# ទស្សនាវដ្ដី

# កម្ពុជសុរិយា

## ឆ្នាំ ទី ១

គ.ស. ១៩២៦-២៧

1926 - 27







បោះពុម្ពលើកទី ២

ក្រោមការរៀបចំនៃគណៈកម្មការទស្សនាវដ្ដីដែលមាន :

នាយកនៃការផ្សាយ : ឈាង-ហ៊ាបអាន

និពន្ធនាយក-អ្នករៀបចំ : ឈី-ឆាមគេង

ព.ស. ២៥១៣

គ.ស. ១៩៧០

ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅទស្សនាវដ្ដីចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំដំបូង

ខ្សែ ១ ដល់ ១២

ក្រសួងសេនាបតីបានអនុញ្ញាតហើយ




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូរីរណោមិន្ត

គ្រិ. ឆ្នាំ ១៩២៦

ពុ. ស. ២៤៦៩

# សេចក្តីប្រារព្ធ

វិជ្ជាឋានមានការពេញចិត្តនឹងរៀបចំបោះពុម្ពឡើងវិញជាថ្មី នូវកម្រងឯកសារទស្សនាវដ្តី "កម្ពុជសុរិយា" តាំងពីឆ្នាំទី ១ រៀងមក ដើម្បីធ្វើជាសៀវភៅមួយៗ សម្រាប់ឆ្លើយតបចំពោះកិច្ចត្រូវការ របស់អស់លោកអ្នកស្រាវជ្រាវអក្សរសាស្ត្រខ្មែរ ។

វិជ្ជាឋានសង្ឃឹមថា កម្រងឯកសារនេះនឹងមានប្រយោជន៍ចំពោះការសិក្សាស្រាវជ្រាវរបស់អស់លោក សមតាមសេចក្តីប្រាថ្នាជាប្រាកដ ។

ភ្នំពេញ ថ្ងៃទី ២៤ ធ្នូ ១៩៦៩

**ឈាង - ហ័បអាន**

នាយកវិជ្ជាឋានពុទ្ធសាសនបណ្ឌិត្យ

# សេចក្ដីបញ្ជាក់អំពីការបោះពុម្ពផ្សាយជាលើកទី ២
# នៃ ទស្សនាវដ្ដី កម្ពុជសុរិយា

សៀវភៅដ៏ក្រាស់នេះ ជាកម្រងទស្សនាវដ្ដី «កម្ពុជសុរិយា» ដែលបោះពុម្ពឆ្នាំទី ១ ពី គ.ស. ១៩២៦-២៧ ។

គោលបំណងរបស់យើង ក្នុងការលើកយកមកបោះពុម្ពជា ១ សៀវភៅនេះជាថ្មី គឺអាស្រ័យដោយសេចក្ដីយល់ថា សព្វថ្ងៃនេះ មានអ្នកសិក្សាស្រាវជ្រាវខាងអក្សរសាស្ត្រ-វប្បធម៌ជាតិកាន់តែច្រើនឡើងៗ ។ ជនទាំងនេះ តែងត្រូវការចាំបាច់នូវឯកសារចាស់ៗដែលមានផ្សាយហើយ យកមកធ្វើការពិនិត្យស្រាវជ្រាវទៅជាការសំអាងហេតុផលផ្សេងៗ ក្នុងស្នាដៃថ្មីរបស់ខ្លួនផង ។ ក្នុងបណ្ដាសៀវភៅអក្សរខ្មែរដែលបោះពុម្ពផ្សាយមុនគេ គឺមានតែទស្សនាវដ្ដី «កម្ពុជសុរិយា» នេះឯង ដែលកាលនោះអស់លោកបណ្ឌិតខ្មែរយើង លោកបានតាក់តែងនិពន្ធអត្ថបទ រៀបរាប់តាមព្រឹត្តិការណ៍ដែលមានក្នុងសម័យនោះ អាចចាត់ទុកបានជាឯកសារយ៉ាងសំខាន់បំផុត ពុំងាយរកបាន ។ អ្នកស្រាវជ្រាវ អាចរកឃើញជាក់ច្បាស់លាស់អំពីហេតុការណ៍ដែលកើតមានក្នុងរវាងជាង ៤០ ឆ្នាំហើយ ។

ប៉ុន្តែ យើងសូមបញ្ជាក់ថា ការបោះពុម្ពគ្រានេះ យើងរៀបចំប្លែកបន្តិចពីច្បាប់ដើមគឺៈ

១- អត្ថបទខ្លីៗដែលមានចុះក្នុងលេខគ ៗ គ្នានោះ យើងស្រង់មកដាក់មួយពួកខាងដើម គ្រាន់តែមានចង្អុលប្រាប់ក្នុងលេខយោងថា ស្រង់

ពីក្នុងក្បាលលេខណាៗ ដើម្បីឱ្យអ្នកស្រាវជ្រាវស្រួលដេញតាមរកប្រភព ។

២- អត្ថបទវែងដែលកាលនោះមានចុះតគ្នាច្រើនលេខ, យើងប្រមូលមកដាក់ភ្ជាប់គ្នាតែម្តង ដើម្បីឱ្យស្រួលអាន តែមានលេខយោងបញ្ជាក់ប្រាប់ប្រភពដើមថា ស្រង់ពីលេខណាៗដែរ ។

៣- មានអត្ថបទវែងពីរ ដែលមានចុះផ្សាយកាលនោះ ប៉ុន្តែឥឡូវយើងពុំបានបោះឡើងវិញទេ គឺ៖

"អភិធម្មត្ថសង្គហៈ ១ និង គតិលោក ១" ។ ហេតុបានជាពុំបានបោះផ្សាយឡើងវិញ ព្រោះយល់ថា ក្នុងឆ្នាំនោះ អត្ថបទទាំងពីរនេះ ក៏ពុំបានចុះផ្សាយចប់ដែរ ហើយវិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យក៏បានយកអត្ថបទទាំងពីរនេះមកបោះពុម្ពជាសៀវភៅរួចស្រេចដាក់ផ្សាយជាយូរឆ្នាំមកហើយផង ។ ម្ល៉ោះហើយ អ្នកស្រាវជ្រាវពុំពិបាកទឹងរកទេ ។

ចំណែកពាក្យពេចន៍ និងឃ្លាល្បះ ជាសំនួនវោហាររបស់អ្នកនិពន្ធ យើងឥតប៉ះពាល់ឡើយ ទុកនៅតាមលក្ខណៈដើមទាំងស្រុង គ្រាន់តែតម្រូវអក្ខរាវិរុទ្ធតាមបែបប្រើសព្វថ្ងៃតែប៉ុណ្ណោះ ។

ដូច្នេះ វិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យសង្ឃឹមថា សៀវភៅនេះ នឹងផ្តល់មធ្យោបាយងាយស្រួលមួយផ្នែកធំ ចំពោះអ្នកសិក្សាស្រាវជ្រាវជាមិនខាន ។

ភ្នំពេញ ថ្ងៃទី ១ មករា ១៩៧២

អ្នកប្រមូលរៀបរៀងបោះពុម្ព

**លី-ធាមតេង**




# មាតិការឿង

# ព្រះបន្ទូលក្រុមព្រះ នរោត្តមភាណុរង្ស[១]

ទីអគ្គមហាសេនាធិបតីសមុហនាយកសេនាបតីក្រសួងមហាផៃ(ផ្ទៃ)

និងធម្មការ នៃព្រះនគរក្រុងកម្ពុជាធិបតី

ទ្រង់ពន្យល់អំពី បង្កើតទស្សនាវដ្ដី សៀវភៅបោះពុម្ព

ព្រះរាជបណ្ណាល័យកម្ពុជា ។

---

ព្រះរាជបណ្ណាល័យក្នុងក្រុងភ្នំពេញ ដែលមានព្រះរាជប្រកាសពីថ្ងៃ ៦ ២ ឆ្នាំជូតឆស័ក ត្រូវនឹងថ្ងៃ១៥ ហ្សង់វីយេឆ្នាំ ១៩២៥ បង្កើតឡើងសម្រាប់តម្កល់សាស្ត្រាបាលី គ្រឿងប្រដាប់សម្រាប់គោរពព្រះពុទ្ធសាសនា និងលិខិតក្បួនខ្នាតក្នុងក្រៅរាជការខេមរៈគ្រប់ជំពូក បានធ្វើការសម្រេចដោយមាំមួនគួរឲ្យសរសើរជាប្រាកដ ព្រោះមានប្រយោជន៍ច្រើនជាន់ដល់រាជការ និងព្រះសង្ឃ និងអ្នកទាំងពួង ទៅមកចូលមើលឬខ្ចីសាស្ត្រាសៀវភៅនិងសំបុត្រ កាសែតនិងរឿងពីផ្សេងៗ យកទៅមើល ឬចម្លងបានតែអ្នកដែលនៅឆ្ងាយខ្លះ មិនស្គាល់មន្ទីរនេះ ខ្លះពិបាកទៅមកដោយឥតបច្ច័យ ឬឥតឱកាស បានជារាជការទើបបង្កើតឲ្យមានទស្សនាវដ្ដី ហៅ "កម្ពុជសុរិយា" បោះពុម្ព១ខែម្ដង អស់ទាំងសេចក្ដីដែលមានស្រាប់ ឬកើតឡើងថ្មី ពីក្នុងឬក្រៅព្រះរាជបណ្ណាល័យ ជាដំណឹងមានប្រយោជន៍ដល់អ្នកទាំង

---

១- អត្ថបទនេះ មានចុះនៅ កម្ពុជសុរិយា ក្បាលទី១ ឆ្នាំ១៩២៦-២៧ ។

ឡាយ ហើយដើម្បីឲ្យអ្នកដែលមានចំណេះផ្សេងៗ បើចង់សុំផ្សាយដំណឹងការអ្វី ៗ និងជូនសេចក្តីមកបោះពុម្ពក្នុងព្រះរាជបណ្ណាល័យកម្ពុជានោះបានដោយងាយ ហើយនិងមានសេចក្តីគាប់ប្រសើរផង ឯអ្នកទាំងពួងគួរឲ្យមានចិត្តចង់ទិញកម្ពុជសុរិយា ទុកមើលជារបស់ខ្លួនតទៅឲ្យគ្រប់គ្នា គំនិតធ្វើទស្សនាវដ្ដីនេះជាវិសេសណាស់ ទ្រង់សូមបញ្ចូលចិត្តអ្នកទាំងឡាយឲ្យទិញមើល និងរិះគិតតែងសេចក្តីផ្សេង ៗ ជាប្រយោជន៍ខាងព្រះពុទ្ធសាសនា ឬខាងចំណេះអក្សរនិងការរបរផ្សេង ៗ និងរឿងគ្រប់មុខ គួរគប្បីឲ្យអ្នកទាំងពួងដឹងយកតម្រាប់តាមនោះ ឲ្យបញ្ជូនមកសុំបោះពុម្ពក្នុងព្រះរាជបណ្ណា-ល័យកម្ពុជាឲ្យរាល់ខែ ដូចនេះតរឯទៀតៗគេចូលចិត្តថ្លែងសេចក្តីដំណឹងពីប្រយោជន៍ការទាំងពួងឲ្យស្គាល់យល់ក្តីជាប្រយោជន៍សាធារណ៍ ឲ្យបានចំរើនគ្រប់ប្រការក្នុងព្រះនគរ ។

ក្នុងឱកាសនេះ យើងសូមឧទ្ទិសប្រាថ្នាឲ្យព្រះរាជបណ្ណាល័យកម្ពុជាប្រកបដោយសេចក្តីបរិបូណ៌និងស្ថិតស្ថេរតទៅ ។

ក្រុមព្រះ នរោត្តម ភាណុវង្ស ទីអគ្គមហាសេនាធិបតី



# កាលាមសូត្រ

គឺព្រះមហាវិមលធម្មពានហ្វាន

សាលាបាលីជាន់ខ្ពស់ ប្រែចេញ

ពីគម្ពីរអង្គុត្តរនិកាយ តិក្កនិបាត

ព្រះគ្រូវិមលបញ្ញា អ៊ុម-ស៊ូរ

អាចារ្យព្រះរាជបណ្ណាល័យ

បានទទួលផ្ទៀងផ្ទាត់រួចហើយ

# កាលាមសូត្រ(១)

## សេចក្ដីផ្ដើម

ព្រះមហាវិមលធម្ម ថោង ចាងហ្វាងសាលាបាលីជាន់ខ្ពស់ សូមថ្វាយព្រះពរជាកុសលចំពោះព្រះករុណាជាម្ចាស់ជីវិត ព្រះចៅក្រុងកម្ពុជា ដោយអាត្មាភាពបានរៀបរៀងសៀវភៅ កាលាមសូត្រ ប្រែចេញពីបាលីគម្ពីរអង្គុត្តរនិកាយតិកនិបាត ហើយបានទាំងទទួលពិនិត្យសៀវភៅពុទ្ធវង្សាវតាររបស់លោកមោនសៀហ្វីណូត៍ ចាងហ្វាងសាលាបារាំងសែសនៅទិសបូព៌ា ដែលលោកបានរៀបរៀង ប្រែចេញពីគម្ពីរភាសាបាលីនិងភាសាសំស្ក្រឹតនិងសេចក្ដីក្នុងចម្លាក់ថ្ម ដែលព្រះបាទធម្មាសោកទ្រង់ឲ្យឆ្លាក់ទុកនៅក្នុងស្រុកមជ្ឈិមប្រទេស នោះមកជាភាសាបារាំងសែស ហើយម៉ាដឺម៉ូអាហ្សែលការប៉ឺឡែស បានឲ្យអ្នកអង្គម្ចាស់វឌ្ឍនាយាវង្ស ប្រែចេញមកជាភាសាខ្មែរហើយ ទើបប្រគល់មកលោកគ្រូវិមលបញ្ញា (អ៊ុម-សូរ) និងលោកព្រះគ្រូសំវិជ្ជា (តាន) ផ្ទៀងផ្ទាត់តាមភាសាបាលីនិងភាសាសំស្ក្រឹតខ្លះ ហើយនិងភាសាខ្មែរ និងសៀវភៅអភិធម្មត្ថ-សង្គហៈ ជារបស់លោកព្រះគ្រូវិមលបញ្ញា (អ៊ុម សូរ) បានរៀបរៀងជាមួយនឹងព្រះគ្រូសំវិជ្ជា (តាន) ប្រែចេញពីបាលី អភិធម្មត្ថសង្គហព្រមទាំងដីកា ហើយនិងលោកព្រះគ្រូសំសត្ថា (ឈាន) ក៏បាន

---

១- អត្ថបទនេះ ដកស្រង់ពី កម្ពុជសុរិយា ឆ្នាំលេខ ១ ឆ្នាំ ១៩៤៦-៤៧ ។

ជួយទំនុកបំរុងក្នុងការរៀបរៀងសៀវភៅនេះដែរ និងគតិលោករបស់ឧកញ៉ាសុត្តន្តប្រីជា ឥន្ទ បានតែងទុកមករួមគ្នាទាំងអស់ត្រូវជា ៤ សៀវភៅក៏ឃើញថាត្រឹមត្រូវតាមគតិធម៌គតិលោក ឥតមានទាស់អ្វីឡើយ ជារបស់មានប្រយោជន៍ដល់ជនានុជនក្នុងលោកនេះ និងលោកខាងមុខផង ។

ម្យ៉ាងទៀតដែលនឹងកើតឡើង ជាសៀវភៅទាំងនេះ នោះ ដោយសេចក្តីឧស្សាហ៍និងការទំនុកបំរុងរបស់ម៉ាដឹម៉ូអាស៊ែលការប៉ែឡែស ជាអ្នករក្សាហោព្រះរាជបណ្ណាល័យ បានចាត់ចែងឲ្យសៀវភៅទាំងនេះ បានឡើងកាន់ពុម្ព ដើម្បីឲ្យបានសម្រេចតាមសេចក្តីប្រាថ្នារបស់ជនានុជនទាំងឡាយ ។



# និទានវចនៈ

## ពាក្យលំនាំជាហេតុជាទីតម្កល់ខាងដើម

---

ព្រះពុទ្ធសករាជ ២៤៦៨

មហាសករាជ ១៨៤៧ ចុល្លសករាជ ១២៨៧ គ្រិស្តសករាជ

១៩២៥ បច្ចុប្បន្នឆ្នាំឆ្លូវសប្តស័ក ។

ព្រះមហាវិមលធម្ម ឧត្តមមេធាវីមហាបរិយត្តិនាយក

តង់ហ្វាន់សាលាបាលីជាន់ខ្ពស់ ។

យើងសូមប្រកាសសេចក្តីពិតរបស់យើង ដែលយើងបានពិនិត្យពិចារណាមើលធម៌វិន័យ ដែលជាព្រះពុទ្ធវចនៈដែលមានក្នុងគម្ពីរព្រះត្រៃបិដកដោយច្រើន ហើយបានយល់ឃើញន័យផ្សេងៗចំពោះខ្លួន ដល់សាធុសប្បុរសទាំងឡាយ ដែលជាអ្នកប្រតិបត្តិតាមពុទ្ធឱវាទប្រាកដ ដើម្បីសំអាតចិត្តឲ្យស្អាតចាកមន្ទិល គឺកិលេសទាំងពួង ហើយប្រាថ្នាទឹងឈានទៅរកលោកុត្តរធម៌ ជាធម៌សម្រាប់ធ្វើឲ្យផុតចាកទុក្ខក្នុងខាងមុខ ។

ហៃសាធុសប្បុរសទាំងឡាយសម័យនេះ ជាសម័យដ៏ឧត្តមប្រសើរពេកណាស់ ដោយព្រះករុណាជាម្ចាស់ជីវិត ទ្រង់ជាការប្រូតិកត្តូកត៍បាកាំងវិសេសជាធំ ក៏លោកជួយឧបត្ថម្ភទំនុកបំរុងពញ្ញាទាំងគ្រឿងរៀនសូត្រទៀត ក៏មានបរិបូណ៌គ្រប់គ្រាន់ឥតមានខ្វះ អ្នកប្រាជ្ញចេះដឹងក៏មាន

ច្រើន វិជ្ជាអ្វីដែលកើតឡើងក្នុងជាន់នេះ សុទ្ធតែវិសេសសុទ្ធតែប្រាកដទាំងអស់ ព្រោះមានអ្នកប្រាជ្ញក្នុងប្រទេសអឺរ៉ុបដែលចេះដឹង ភាសាបាលីព្រះត្រៃបិដក នូវភាសាសំស្ក្រឹតដ៏ចំណាប់ៗក៏ច្រើន ហើយអាចទៅកមកគ្នាបាន ទឹងចង់ផ្ទៀងផ្ទាត់គម្ពីរបាលីធម៌វិន័យ ទៅវិញទៅមកបានដោយងាយ លោកអ្នកប្រាជ្ញទាំងនោះមិនមែនចេះដឹង តែដោយសារមើលគម្ពីរបាលីក្បួនខាតនោះទេ គឺចេះដោយមានព្យាយាមបានត្រេចចរទៅមើលទីកន្លែង ដែលជាដំណែលធ្លាប់មានព្រះពុទ្ធសាស-នាឯណាៗគ្រប់តំបន់ទាំងអស់ តែមានចន្លោះដោយជាក់ច្បាស់ទីកន្លែងដូចជាកន្លែងព្រះសម្មាសម្ពុទ្ធទ្រង់ប្រសូតក្តី ទ្រង់ត្រាស់ដឹងនូវបរមាភិ-សម្ពោធិញ្ញាណក្តី ឬទីកន្លែងដែលព្រះពុទ្ធទ្រង់យាងទៅកាន់ទីណាៗក្តី ក៏បានឃើញទាំងអស់ ហើយបានទាំងថតរូបជាគំរូដែនទី យកមកឱ្យឃើញដល់កន្លែងយើងកល់គ្នាផង នេះជាការពិតណាស់ គួរឱ្យសាធុសប្បុរសទាំងឡាយកល់គ្នា ខំយកចិត្តទុកដាក់រៀនសូត្រ ធម៌វិន័យឲ្យណាស់ តទៅមុខៗជាទឹងមានសេចក្តីចំរើនវិជ្ជាចំណេះ ច្រើនក្រៃលែងជាងនេះទៅទៀត ដោយប្រទេសយើងសព្វថ្ងៃនេះ ក៏កាន់តែរុងរឿងស្តុកស្តម្ភមាំមួនជាងពីដើមបន្តិចហើយ តែជាបើអ្នកប្រតិបត្តិធម៌វិន័យឲ្យកាន់ប្រចាំ ដោយប្រកាន់មាំក្នុងអាការទាំង ១០ យ៉ាង ដែលព្រះសម្មាសម្ពុទ្ធជាម្ចាស់ទ្រង់សំដែងទុកក្នុង កាលាមសូត្រ ដែលមាន

ក្នុងគម្ពីរ អង្គុត្តរនិកាយ តិកនិបាត ប្រារព្ធនឹងពួកជនជាកាលាម-គោត្រ នោះហើយព្រះពុទ្ធសាសនា ក៏នឹងវិនាសសាបសូន្យអាប់អួន ទៅដោយឆាប់មិនខាន ផ្លូវប្រតិបត្តិសោតក៏នឹងកើតវិបរិតវិបត្តិប្រែប្រួល រករោលពារែកគ្នា ជាហេតុនាំឲ្យមនុស្សល្ងង់វង្វេងវិលវល់អាប់ឥត ប្រាជ្ញាយល់ខុសថាជាត្រូវ ហេតុនេះអ្នកប្រតិបត្តិធម៌វិន័យ ត្រូវឲ្យលះ បង់អាការទាំង ១០ យ៉ាង ដែលទ្រង់ហាមមិនឲ្យជឿកាន់យកនោះចេញ ស្រឡះពីខន្ធសន្តាន ទើបនឹងចំរើនវិជ្ជាចំណេះនិងផ្លូវប្រតិបត្តិត្រង់ទៅ បាន ព្រះពុទ្ធសាសនាក៏នឹងរុងរឿងដោយសារអ្នកប្រតិបត្តិត្រឹមត្រូវមិន ឲ្យភ័ន្តច្រឡំនោះឯងដោយជាក់ស្តែង ។

## ឯអាការទាំង ១០ យ៉ាងនោះ

១. អនុស្សវេន ប្រកាន់ជឿតាមពាក្យដែលឮតៗគ្នាមក ជឿ ដោយឮដំណឹងគេនិយាយតៗគ្នាមក មិនមានពិនិត្យពិចារណាសាកសួរ អ្នកប្រាជ្ញ ឬរៀនសូត្រឲ្យឃើញប្រាកដជាក់ច្បាស់តាមពុទ្ធវចនៈ ស្រាប់ តែឮហើយ ក៏ជឿកាន់យកតែម្តងទៅ ។

២. បរម្បរាយ ប្រកាន់ជឿតាមពាក្យបរម្បរាគឺពាក្យជាលំដាប់គ្នា មក ប្រកាន់ជឿទំនៀមទម្លាប់ឯណាខុស ៗ ដែលធ្លាប់ឃើញគេធ្វើពី ដើម ៗ មក (ទំនៀមទម្លាប់ខុសចាកព្រះពុទ្ធវចនៈ)

៣. ឥតិកិរាយ ប្រកាន់ជឿដោយចូលចិត្តថាបានឮមកជាហេតុ

នេះយ៉ាងដូច្នេះ ប្រកាន់ជឿដោយអាងថាខ្ញុំបានឮមកដូច្នេះប្រាកដយ៉ាងនេះ (ពាក្យព្រេងដែលគេនិយាយលេងត ១ គ្នាមក) ។

៤-បិដកសម្បទានេន ប្រកាន់ជឿដោយអាងថាពាក្យនេះ សមមួយអន្ទើដោយរបៀបបិដករបស់យើងហើយ គឺអាងក្បួនតម្រាដែលខុសអំពីព្រះពុទ្ធវចនៈ ។

៥-តក្កហេតុ ប្រកាន់ជឿដោយសេចក្តីប្រកាន់នូវហេតុដែលគិតស្មានប្រមាណយកដោយខ្លួនឯង គឺឃើញយ៉ាងណា ក៏ជឿកាន់យកយ៉ាងនោះ (ស្រេចតែនឹងនឹកឃើញមិនរវល់ពីខុសត្រូវឡើយ) ។

៦-នយហេតុ ប្រកាន់ជឿដោយគ្នរគ្នាន់ កាត់តម្រួយផ្សផ្សំយក គឺសំគាល់យកពាក្យឯណាមួយ ដែលមានចំនួនប្រហែល ១ គ្នា មកផ្សំផ្គុំផ្គងប្រកបគ្នា ហើយក៏ឲ្យឈ្មោះតាមចំនួននោះទៅ ដូចពាក្យថាអានិសង្ស ៥ មាតិកា ៨ ដែលមានក្នុងកឋិនខន្ធ គឺជាសេចក្តីផ្សេងអំពីសីល ៥ សីល ៨ ឃើញថា ៥ ១, ៨ ១ ដូចគ្នាដូច្នោះ ក៏ពោលប្រកបឲ្យឈ្មោះថា អានិសង្ស ៥ នោះ គឺសីល ៥ មាតិកា ៨ គឺសីល ៨ ដូចពាក្យព្រះត្រៃលក្ខណ៍ ឃើញមានអក្សរលោកបូលក្នុងនោះខ្វះ ក៏សំគាល់ថាព្រះត្រៃលក្ខណ៍នោះ អ្នកណានិយាយមិនបានទេ ព្រោះព្រះពុទ្ធលោកលាក់មិនឲ្យប្រាប់អ្នកណាទេ, ដូចពាក្យថា នមោពុទ្ធាយ អក្សរ ៥ តួនេះ ជាពាក្យបាលីសម្រាប់នមស្ការថ្វាយបង្គំព្រះពុទ្ធ ឃើញពាក្យបាលី

នេះមានអក្សរ ៤ តួដូច្នោះ ក៏យកទៅផ្សំប្រែកបតម្រូវទិសព្រះនាមព្រះពុទ្ធទាំង ៤ ព្រះអង្គដែលមានក្នុងកប្បនេះ ហើយពោលថា នមោពុទ្ធាយ នេះគឺតួព្រះពុទ្ធទាំង ៤ ព្រះអង្គ ឯពាក្យប្រែកបដូច្នោះ ខុសពាក្យពុទ្ធវចនៈ

៧- អាការបរិវិតក្កេន ប្រកាន់ជឿដោយកិរិយាត្រិះរិះ ដោយហេតុថា ហេតុនេះល្អ គឺហេតុអ្វី ១ ដែលកើតឡើងហើយ តែមិនមែនជាធម៌ពិតក៏យកហេតុនោះមកត្រិះរិះផ្គូផ្គងមើល បើហេតុឯណាដែលពេញចិត្តខ្លួនក៏ពោលថាល្អ ថាត្រូវហើយ ១ ក៏ប្រព្រឹត្តកាន់យកតាមសេចក្តីត្រិះរិះនោះទៅ ។

៨- ទិដ្ឋិនិជ្ឈានក្ខន្តិយា ប្រកាន់ជឿដោយគិតថា ហេតុនេះសមនឹងយោបល់យើង ដែលសម្លឹងឃើញថាគួរអ្នកកាន់យក គឺហេតុអ្វី ១ ដែលមិនមែនជាធម៌ពិត កើតឡើងហើយត្រូវនឹងគំនិតខ្លួនដែលធ្លាប់គិតទុកមក ក៏ចូលចិត្តថាហេតុនោះត្រូវហើយ ពិតហើយ ១ ក៏ប្រតិបត្តិកាន់យកតាមហេតុដែលសមនឹងយោបល់គំនិតនោះឯងទៅ ។

៩- ភព្វរូបតាយ ប្រកាន់ជឿដោយគិតថា លោកនេះជាអ្នកគង់អាចចេះដឹងគួរតែយើងជឿកាន់យកតាមពាក្យលោកនេះ គឺបើមានអ្នកណាមួយគេចេះប្រសប់ខ្លាសក្នុងពាក្យសំដីថ្វីមាត់ ចេះនិយាយស្រួលពិរោះឥតអាក់ តែពាក្យសំដីនោះមិនមែនជាធម៌ពិតទេ ស្តាប់ហើយក៏ប្រកាន់ជឿតាមពាក្យដែលគេនិយាយស្រួលនោះទៅ ។

១០- សមណោ នោ គរុ ប្រកាន់ជឿដោយគិតថាសមណ នេះជាគ្រូរបស់យើង គួរយើងកាន់យកតាមពាក្យសមណៈនេះប្រកាន់ជឿ តាមលទ្ធិគ្រូរបស់ខ្លួនបើទុកជាគ្រូនោះនិយាយខុសក៏ដោយ ក៏ចេះតែជឿ កាន់យកតាមទាំងអស់ ពោះមានអ្នកណាមួយក្រៅអំពីគ្រូរបស់ខ្លួន គេ និយាយត្រូវតាមធម៌វិន័យរបស់ព្រះពុទ្ធជាម្ចាស់ដូចម្ដេចៗ ក៏មិនជឿមិន កាន់យកតាម ។

អ្នកប្រព្រឹត្តប្រតិបត្តិធម៌វិន័យក្នុងព្រះពុទ្ធសាសនា ត្រូវតែរាំងតាំង សតិបញ្ញាឲ្យមានមាំមួនកុំឲ្យអាការទាំង ១០ យ៉ាងនេះ ចូលមកដល់ពាល់ ត្រូវក្នុងចិត្តសន្ដានបានឡើយ ។

មួយទៀតព្រះពុទ្ធសាសនា ដែលនឹងសាបសូន្យថោកថយទៅ ព្រោះអ្នកប្រតិបត្តិប្រកបដោយហេតុ ៤ ប្រការ ដែលព្រះសព្វញ្ញុពុទ្ធជា ម្ចាស់ទ្រង់សំដែងទុកក្នុងគម្ពីរ អង្គុត្តរនិកាយបញ្ចកនិបាត ។

ឯហេតុ ៤ ប្រការនោះគឺ:

១- ន សក្កច្ចំ ធម្មំ សុណាតិ មិនស្ដាប់ធម៌ៈដោយគោរព គឺស្ដាប់ធម៌ៈដោយមិនសង្រួមកាយ ឬថា ផ្ចង់ស្មារតីគោរពធម៌ គឺមិនបង្អោន កាយ ឬថា ចិត្តទៅរកធម៌ ។

២- ន សក្កច្ចំ ធម្មំ បរិយាបុណាតិ មិនរៀនទន្ទេញធម៌ ដោយគោរព គឺរៀនទន្ទេញតែមាត់ មិនបានប្រុងស្មារតីកំណត់ឲ្យចាំ

ប្រាកដនូវធម៌នោះ ។

៣- ន សក្កច្ចំ ធម្មំ ធារេន្តិ មិនបានទ្រទ្រង់នូវធម៌ទុកក្នុងចិត្តដោយគោរព គឺមិនបានរៀននូវធម៌ឲ្យត្រូវតាមអត្ថព្យញ្ជនៈ គឺរៀនធម៌ឲ្យឃ្លាត ឲ្យភ្លាត់ខុសពាកអក្ខរសម្បត្តិ ។

៤- ន សក្កច្ចំ ធតានំ ធម្មានំ អត្ថំ ឧបបរិក្ខន្តិ មិនពិចារណានូវសេចក្តីនៃធម៌ដែលខ្លួនទ្រទ្រង់ទុកនោះដោយគោរព គឺមិនដឹងមិនយល់ច្បាស់នូវសេចក្តីអធិប្បាយនៃធម៌ដែលខ្លួនទ្រទ្រង់នោះ ។

៥- ន សក្កច្ចំ អត្ថមញ្ញាយ បដិបជ្ជន្តិ ដឹងនូវសេចក្តីអធិប្បាយនៃធម៌ហើយ មិនប្រតិបត្តិតាមដោយគោរព គឺទោះដឹងធម៌វិ-ន័យ ព្រមទាំងសេចក្តីអធិប្បាយ មិនប្រតិបត្តិឲ្យត្រូវតាមច្បាប់ធម៌វិន័យនោះ ។

អាការៈទាំង ១០ យ៉ាងក្តី ហេតុទាំង ៥ ប្រការក្តី ដូចបានសំដែងពណ៌នាមកដោយសង្ខេបនេះ ជាហេតុនាំឲ្យព្រះពុទ្ធសាសនាវិនាសរហូតសូន្យទៅដោយពិត បើអ្នកប្រតិបត្តិតាំងចិត្ត ប្រុងស្មារតី គិតវៀរលែងអាការ ១០ យ៉ាង ហេតុ ៥ ប្រការនេះហើយ ព្រះពុទ្ធសាសនានឹងថ្កុំថ្កើងរុងរឿងវែងឆ្ងាយតទៅ ។

(ចប់បរិបូណ៌តែប៉ុណ្ណោះ)



# ប្រកាស(១)

ក្រសួងព្រះរាជបណ្ណាល័យ គិតតាំងឲ្យប្រឡងវិជ្ជាតែងល្បើកជាពាក្យកាព្យបីយ៉ាង ក្នុងមួយយ៉ាងឲ្យរង្វាន់ជាប្រាក់ពី ១០០ រៀលឡើងទៅ ។ មួយយ៉ាងឲ្យតែងល្បើក ដំណាលកេរ្តិ៍កាល ពីដើម តែងជាសេចក្តីវែងរឿងទីមួយ ៗ នៅក្នុងរាជសម្បត្តិព្រះបាទសម្តេចព្រះអង្គឌួង ឬព្រះអង្គចន្ទ ។

២. យ៉ាងឲ្យប្រែគម្ពីរបាលីគម្ពីរមួយជាភាសាខ្មែរ ដែលពុំទាន់បោះពុម្ពចេញជាភាសាខ្មែរនៅឡើយ ។

៣- យ៉ាងឲ្យតែងល្បើកសាសព្វពីសេចក្តីដែលជាតិខ្មែរប្រាស្រ័យរាប់អានគ្នាទៅវិញទៅមក គឺប្រាស្រ័យចំពោះទៅអ្នកដែលជាមិត្រសាលោហិតក្នុងបន្ទុកមួយជាមួយគ្នាក្តី ចំពោះពីគ្រួសារទទៃ ៗ ពីគ្នាក្តី ចំពោះលើមិត្រវិសាសៈ ឬជាគូជាមួយគ្នាក្តី របៀបនៃត្រកូលមនុស្សទាំងបួន គឺ ព្រះសង្ឃ ស្តេច មន្ត្រី រាស្ត្រ ដែលមានឧបការនឹងគ្នាទៅវិញទៅមក ។ បើឈ្មោះណាចង់ប្រឡងត្រូវឲ្យតែងសេចក្តីដំណាល រឿងតាមស្មានដែលខ្លួនយល់គួរធ្វើ បើនឹងធ្វើតែ ១ រឿងឬច្រើនរឿងក៏បានដែរ តែក្នុង ១ រឿងកុំឲ្យហួសពី ២៥០ ទំព័រ ។

ក្នុងរវាង ៤ ខែគិតពីខែឧសភ ឆ្នាំ ១៩២៦ ឲ្យផ្ញើសេចក្តីដែលតែង

---

១- អត្ថបទនេះ មានចុះក្នុងកម្ពុជសុរិយា ក្បាលលេខ ៤ ឆ្នាំ ១៩២៦-២៧ ។

នោះទៅក្រសួងព្រះរាជបណ្ណាល័យ ហើយត្រូវឲ្យកត់សំគាល់នាមត្រកូល និងទីលំនៅរបស់ខ្លួនផង ។

ឯរឿងល្បែងនានា ដែលបានតែងធ្វើហើយនោះ ក្រសួងព្រះរាជបណ្ណាល័យ នឹងដាក់ឲ្យក្រុមជំនុំខាងបោះពុម្ព ពិនិត្យមើលវិជ្ជាការថ្វីដៃ អ្នកណាល្អនឹងឲ្យរង្វាន់ ជាប្រាក់ពី ១០០ រៀលឡើងទៅ រួចសេចក្ដីដែលតែងនោះ នឹងបោះពុម្ពចេញតាមការ ។



# និយាយពីលោក អូគុស្ត ប៉ាវី(១)

ដែលលោកអូគុស្តប៉ាវី ទទួលអនិច្ចកម្មមួយឆ្នាំទៅហើយក្នុងអាយុ ៧៨ ឆ្នាំនេះ នគរបារាំងសែសខាតអ្នកដើរកេស្រុកដែលបំពេញកិត្តិយស ដល់នគរបារាំងសែស ជាទីបំផុត ហើយនិងអ្នកម្នាក់ជាយ៉ាងសំខាន់ដែល បណ្ដាលឲ្យនគរបារាំងសែស មានខេត្តដែនកែនៅទីដែនប្រទេសទ្វីបអាស៊ី ។

លោកប៉ាវីធ្វើការមុនដំបូងដោយខ្សែក្រណាស់ ក្រោយនោះមក ដល់ឆ្នាំ ១៨៦៨ លោកមកដល់ស្រុកកូសាំងស៊ីនធ្វើជាទាហានៈជើងទឹក ដល់ឆ្នាំក្រោយមកនោះ លោកចេញពីធ្វើទាហានបានពាក់សក្តិ ១ ចូល ទៅធ្វើការខ្សែល្លួសក្នុងស្រុកនោះ ហើយចេញពីខ្សែល្លួសទៅជួយ នគរបារាំងសែស ច្បាំងនឹងអាល្លឺម៉ង់ក្នុងឆ្នាំ ១៨៧០-១៨៧១ ដល់ លោកប៉ាវីត្រឡប់មកពីចម្បាំងវិញ គេបញ្ជូនលោកទៅកំពត (ក្រុងកម្ពុជា) លោកក៏រៀនអក្សរនិងភាសាខ្មែរនៅស្រុកនោះ ហើយក្នុងវេលា នោះ លោកគិតរៀនសេចក្តីចេះដឹងរបស់ខ្មែរពីដើម ដោយទឹងដើរ សង្កេតមើលទីដីស្រុក ក្នុងឆ្នាំ ១៨៨០ លោកមីរើដីពីល្បូរ កាលណោះ ជាទីតួវិរណោះស្រុកកូសាំងស៊ីន ប្រើលោកប៉ាវីឲ្យទៅមើលបាត់ការត ខ្សែល្លួសពីភ្នំពេញទៅបាងកក លោកប៉ាវីក៏ដើរមើលស្រុកគ្រប់អន្លើជួន ណាជាមួយនឹងលោកអេទីអែនអែមោនីញ ជួនណាតែម្នាក់លោក ហើយ

១- អត្ថបទនេះ ... កម្ពុជសុរិយា ក្បាលលេខ ១ ឆ្នាំ ១៩២៦-២៧ ។

សរសេររឿងអំពីដំណើរលោកខ្លះ ក្នុងសៀវភៅដែលមានតម្លៃ ដែលបោះពុម្ពព្រៃនគរក្នុងកាលនោះ ហើយដែលហៅថា “ដើរមើលទិសពិនិត្យឲ្យបានស្គាល់ស្រុកប្រទេស” (អេក្សកុរស៊ីយុង អេ រេកុណែសសង់សេ)។

គឺក្នុង ឆ្នាំ ១៨៨០ នោះដែរ ដែលលោកប៉ាវីបាននាំកូនជំទង់ខ្មែរខ្លះទៅស្រុកបារាំង ដើម្បីនឹងឲ្យរៀនសូត្រ សេចក្តីនេះហើយដែលនាំបង្កើតឲ្យមានសាលាខ្មែរ ដែលនៅស្រុកបារាំងនោះហើយដែលជាដើមកំណើតមួយ របស់សាលាស្រុកចំណុះ (អេកុលកូឡូញ៉ាល់) សព្វថ្ងៃនេះ ។

ក្រោយបន្តិចមកទៀត ដល់លោកត្រឡប់មកពីស្រុកបារាំងវិញ មកធ្វើជាកុងស៊ុលនៅស្រុកហ្លួងប្រាបាង ហើយដល់លោកបានមកកាន់ស្រុកនោះកាលណា មិនមែនឥតសេចក្តីលំបាកឡើយ ដោយហេតុសៀមបង្កើតឲ្យមានសេចក្តីលំបាកគ្រប់ជំពូកដល់លោក លោកប៉ាវីក៏ចាប់ធ្វើការខាងវិជ្ជាសិល្បសាទលោកតទៅទៀត (ខែហ្វេរិយេ ១៨៨៧) លោកប៉ាវីមិនសុខចិត្តតែនឹងសម្រេចឲ្យបាន មនុស្សស្រឡាញ់លោកប៉ុណ្ណោះឡើយ ភាពមាំទាំរបស់លោករៀងរហូតទៅដល់ឆ្នាំ ១៨៨៩ លោកទើបតែនាំឲ្យបានសម្រេច ការបង្ក្រាបសត្រូវនៅក្នុងស្រុកនោះឯងដែលមានបះបោរ ដែលមានពួកហូគឺសាសន៍ចិនគំនិតអាក្រក់មានទង់ជ័យក្រហម លឿង ឬខ្មៅ ធ្វើកិច្ចការដោយទូគំណាបខ្លួន ពង្រាបហ្វាយ ដែលធ្វើយ៉ាងដូច្នេះបានដោយសារតែយួននឹងសៀមទាស់គ្នា តាំងពីមាន

សេចក្ដីប្រាថ្នាដូចគ្នា ហើយទិងដោយសារសាសន៍ទាំង ២ នេះខ្សោយ ក្នុងវេលានោះដែរ ដែលលោកប៉ាវីរកសម្គាល់ស្រុកក្នុងដែនលាវ ការដើររកសម្គាល់ស្រុកនេះ លោកបានធ្វើពីកាលជាន់មុននៅដែនខ្មែរហើយ ជាប់តាំងពីដើមខែហ្វេវរីយេ ១៨៩០ ទៅ លោកប៉ាវីដើរមើលសម្គាល់ស្រុកទេសជាច្រើន ហើយដែលនៅជ្រៅៗក្នុងស្រុកតាន្ទីន និងស្រុកដែលនៅកណ្ដាលជួរភ្នំស្រុកអណ្ណាមនិងទន្លេធំ ដោយសារតែការនេះហើយបានជាគេស្គាល់ជាម៉ាត់បត់ថែមទៀតបាន ស្រុកដែលនៅជិតក្រុងកម្ពុជា ដោយសារតែការនេះដែរ ដែលបានសង្កេតពិនិត្យមើលស្រុកជាច្រើននៅត្រើយខាងស្ដាំទន្លេមេគង្គ ។

រួចពីនោះមកទៀត លោកប៉ាវីបានតាំងជាកុងស៊ុលហ្ស៊េណេ-រ៉ាល់នៅក្រុងបាងកក កាលលោកនៅក្នុងនាទីកុងស៊ុលនេះ លោកបានតែងសញ្ញាត្រេតេបារាំង និងសៀមចុះថ្ងៃ ៣ តុកតូប ឆ្នាំ ១៨៩៣ ហើយក្រោយមកទៀតក្នុងវេលាដែលកដការបាត់ការផ្សេងៗឲ្យលោកធ្វើ លោកប៉ាវីបានធ្វើឲ្យសម្រេចតាមសញ្ញាត្រេតេនោះ លោកប៉ាវីបានសម្រេចដែនស្រុកចិន និងស្រុកចំណុះបារាំងដែលនៅកណ្ដាលទន្លេ «ហ្វៀលីវ៉ូស» និងទន្លេមេគង្គដែរ លោកប៉ាវីបាត់ការទាំងនេះ បានសម្រេចទាំងអស់ ហើយលោកត្រឡប់ទៅស្រុកបាងកក ទាល់តែដល់វេលាដែលលោកពិសាររ៉េត្រែត គឺក្នុងឆ្នាំ ១៩០៤ ហើយលោកត្រឡប់ទៅស្រុកបារាំងវិញ ។ ៤

ប៉ុន្តែលោកប៉ាវីដែលជាអ្នកនេះ ទៅស្គាល់ស្រុកដែលកាលណោះ គេមិនទាន់ស្គាល់នៅឡើយ ហើយដែលនេះនាំឲ្យគេចំណាំផ្លូវប្រវែងជាង ៣០.០០០ គីឡូម៉ែត្រ មិនមែននៅស្ងៀមទេ លោកនេះតែធ្វើឲ្យបារាំងស្គាល់ស្រុកដែលលោកបានទៅ និងស្គាល់អ្នកស្រុកដែលលោកដឹងចិត្ត ហើយដែលលោកស្រឡាញ់ ដោយលោកបានឲ្យបោះពុម្ពសៀវភៅលោកដែលនិយាយអំពីការដែលពួកលោកប៉ាវីធ្វើ និងអំពីរឿងព្រេងនៅក្នុងស្រុកខ្មែរនិងស្រុកលាវ ។

អ្នកទាំងប៉ុន្មានដែលធ្លាប់ស្គាល់លោកប៉ាវី និងធ្លាប់សរសើរចិត្តល្អរបស់ផងលោក កាលបើដឹងថាលោកប៉ាវីអនិច្ចកម្មហើយ និងទប់កុំឲ្យមានសេចក្តីទុក្ខមិនបាន ។



# មរណភាព លោកប៉ាន់ទីយេ(១)

---

លោកគ្រូពេទ្យ ប៉ាន់ទីយេ ទទួលអនិច្ចកម្ម ឯស្រុកបារាំងសែសទៅហើយ អាយុបាន៥៦ ឆ្នាំ ។

គ្រូពេទ្យ ប៉ាន់ទីយេនេះបានមកនៅធ្វើការក្នុងស្រុកកម្ពុជាចំនួន ២០ ឆ្នាំ ហើយចេះភាសាខ្មែរ ដូចបណ្ដាជនស្រុកអាយមានសេចក្ដីមេត្រីកប់អានស្រឡាញ់ជាតិខ្មែរជាប្រាកដ ។

លោកប៉ាន់ទីយេ បានតែងសៀវភៅ វចនាសព្ទ-បារាំង ប្រែជាខ្មែរ សៀវភៅតម្រាប់ក្មេងរៀនភេក សៀវភៅពាក្យទំនឹមទំនៀមខ្មែរ ហើយនឹងសៀវភៅអភិធានសព្ទខ្មែរដែលលោកមេនទ្រីយេ ជួយតែងផង ។



---

១- អត្ថបទនេះចុះក្នុងកម្ពុជសុរិយា ក្បាលលេខ ១ ឆ្នាំ១៩២៦-២៧ ។

# អធិប្បាយសង្ខេប

## អំពីបឋមសាសន៍[១]

របស់អ្នកអង្គម្ចាស់ វឌ្ឍនា យាវង្ស អគ្គយតិស្សរ

---

ក្នុងបឋមកប្ប គឺបក្រាវឡូបណ្ដាលកើតឡើងដោយធម្មជាតុ សន្មត ហៅថាកពា នោះមានជាតិ ដីថ្ម លតាវល្លិ៍ និងឈើ ជាហេតុឲ្យ អាស្រ័យដល់ជាតិសត្វប្រកបដោយវិញ្ញាណ (ល) លុះកន្លងឆ្នាំជាអនេ្វង មកទើបមានមនុស្សជាតិជាឯក្រោយបំផុត ។

តាំងពីអតីត លុះមកដល់បច្ចុប្បន្នឥឡូវនេះជាតិដែលមានជីវិត ប្រកបដោយវិញ្ញាណទាំងប៉ុន្មាន តែងអាស្រ័យគ្នាជាភក្សាហារទៅវិញទៅមក សត្វដែលមានជីវិត កាលកើតមកកាន់ភពលោកនេះ សុទ្ធតែមាន គ្រឿងប្រដាប់សម្រាប់កាយ ទុកជាអាវុធការពារ និងទំនុកបំរុងជីវិត លើកតែមនុស្សជាតិកើតមកគ្មានគ្រឿងអ្វីរក្សាការពារសត្រូវសោះឡើយ អាស្រ័យតែព្រឹក្សា ឬគូហាជាទីស្ថានសំណាក់ពឹងពាក់ លាក់ខ្លួនទីង សត្វសាហាវ ៗ កាលបើព្រះអាទិត្យអស្តង្គត ចូលកត្រៃទៅកាលណា ក៏នាំគ្នាភិតភ័យដល់ជីវិត ដោយម្រឹគខ្លូយក្សដែលជាបច្ចាមិត្ររបស់ខ្លួន ក្រែងពួកខ្លាំងទាំងនេះមកបំទន្ទារបៀតបៀនដល់រូបកាយ ម្ល៉ោះហើយក៏ បបួលគ្នាទៅរកទីសំណាក់ពួនលាក់ខ្លួន បំបាំងអំពីសត្រូវទាំងឡាយនោះ

---

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយា ក្បាលលេខ ២ ឆ្នាំ ១៩២៦-២៧ ។

ដូនកាលក៏ស្រែកខ្ញូរយំប្រកាសរកលោកឯណាដ៏មានឫទ្ធិ ដើម្បីឲ្យជួយ
សង្គ្រោះជីវិត លុះអរុណរះឡើងកាលណា ទើបស្វាងទុក្ខដោយហេតុជា
បញ្ញានៃខ្លួនទន់ទាប ក៏យកសេចក្តីទុក្ខារម្មណ៍មកសន្និដ្ឋាន ថា បើកាល
ណាខ្លួនបន់ស្រន់ដោយប្រការនោះឡើង នឹងបង្កើតឲ្យមានស្មើមិនខាន
ម្ល៉ោះហើយក៏នាំគ្នាមកប្រតិស្ឋាននិយមព្រមព្រៀងកំណត់ថា គឺព្រះអាទិត្យ
នេះហើយជាអង្គលោកដ៏មានឫទ្ធិ ជាទីឧត្តមនៃខ្លួនបានជានិរន្តរ៍តទៅ
រួចក៏មានសេចក្តីសោមនស្ស និងស្នើសុំនោះនេះ ថ្វាយសព្វសាធុការពរ
ដោយមធុរពាក្យផ្សេងៗ នេះហើយគឺជាហេតុឲ្យកើតលទ្ធិសាសនាក្នុងគ្រា
នោះ ព្រោះមនុស្សយកហេតុថា បើខ្លួនបានអធិដ្ឋានដល់លោកក្នុងគ្រា
ណា លោកក៏មានមេត្តាជួយកំចាត់នូវងងឹតញាំងឲ្យភ្លឺឡើងបាន គឺធ្វើ
នូវទុក្ខខ្លួនឲ្យស្រាលស្បើយ (ប៉ុន្តែឯយប់និងថ្ងៃ រមែងមានមកជាធម្មតា
ក្នុងលោក) កាលណាព្រះអាទិត្យលិចទៅ មនុស្សទាំងឡាយក៏នាំគ្នា
ប្រជុំធ្វើនូវកិច្ចអធិដ្ឋានជាថ្មី គ្រាតែអរុណរះឡើងទើបឈប់ កិច្ចប្រតិបត្តិ
នេះជាប់ជាអចិន្ត្រៃយ៍ ។

លុះកន្លងជាអង្វែងមក ខ្លួនមានគំនិតគិតឃើញថា បើជាប់កិច្ចកល់
ប្រាណដោយប្រការនេះ ឃើញថានឹងខូចខាតអន្តរាយដល់ប្រយោជន៍
លៀងជីវិត ដែលត្រូវពេលជាមួយគ្នានឹងកិច្ចគោរពនោះ ទើបបបួល
គ្នាតាំងបង្កើតជាក្រុមមួយផ្សេង ដើម្បីទុកសម្រាប់គ្រាន់ជាអ្នកអធិដ្ឋាន

ដូចខ្លួនទាំងអស់គ្នា ៗ កាលបើខ្លួនមានទុក្ខភ័យមកដល់កាលណា ក៏បបួលគ្នាទៅកាន់សំណាក់ក្រុមដែលខ្លួនតាំង ថ្វាយនូវទុក្ខដែលខ្លួនមានចំពោះដល់ក្រុមនោះសុំឲ្យជួយសម្រេចសេចក្ដីមនោរថដែលខ្លួនប្រាថ្នា គឺក្រុមនេះហើយបានទីអាស្រ័យនៃអ្នកភាំងពួន ៗ ឯក្រុមដែលតាំងនោះគឺកាន់យកកេខ្មៃពួកអំពីជននិករប្អូនសន្តានខ្លួនហៅថា យតិបាធ្យាយ ឬ សង្ឃក្នុងគ្រានោះ ៗ

ក្រុមនេះឯងដល់ប្រតិបត្តិរៀង ៗ មក គេក៏សន្មតទុកដូចអ្នកមានឫទ្ធិដែរ ព្រោះថាអ្នកបានចូលទៅជិតសុរនាថច្រើនជាងបុថុជ្ជន មនុស្សក៏នាំគ្នាទៅធ្វើ នមស្សការបូជាគោរពដោយគ្រឿងអមិស្សវត្ថុផ្សេង ៗ គឺទុកក្រុមនេះឯងដូចស្ពាន ជាអ្នកទទួលបម្រុងយកនូវអមិស្សវត្ថុនោះទៅថ្វាយដល់សុរនាថដូសខ្លួនដោយក្រុមនេះជាអ្នកធ្លាប់នមស្សការ ក៏និយមថាក្រុមនេះជាអ្នកចេះ និយាយនឹងអស់លោកដ៏មានឫទ្ធិបាន ក្នុងចិត្តខ្លួនក៏មានអាងសង្ឃឹមថា បើកាលណា មានទុក្ខភ័យមកដល់ក៏នឹងរត់ទៅសុំឲ្យក្រុមនេះជួយ ៗ សេចក្ដីជឿកើតមកពីភ័យ ដ្បិតមនុស្សក្នុងលោកមិនដែលមានទំនេរ គឺសុទ្ធតែមានចិត្តត្រូវទីពឹងទៅអ្នកឯណាផ្សេង ៗ ជាដរាប ៗ ដល់សេចក្ដីដែលជឿនូវបដិសរណៈអន្លើងមក អំណាចឫទ្ធិឫទ្ធិនៃសុរនាថក៏ធ្លាក់មកលើពួកនេះខ្លះ រីឯឫទ្ធិឫទ្ធិសោតក៏គង់មាននាំដួលរៀប្រប្រួលទៅតាមតែជ័យចិត្តមនុស្សស្មា ៗ

ចំណែកពួកអ្នកមានកេរកាន់តែតាមទំនៀមជាចម្លង ៗ គ្នាមក មិនបានជាអ្នកប្រឹក្សាជជែកវិបត្តិ សង្ស័យឲ្យឃើញបែបឫសគល់ផលយ៉ាងណាឡើយ សេចក្តីបន្ទោះត្រង់ណា ក៏គ្រាន់តែស្ញើបំពេញសម្រាប់ទុកទីងទទួលភារៈអំពីបុព្វជនប៉ុណ្ណោះ ។

កាលណាជនទុកវេទនាមានច្រើនឡើង សេចក្តីមនោរថប្រាថ្នា ក៏មានកើតតាមជនដែលកិច្ចនៃអ្នកប្លែងគេ ក៏បង្កើតកាន់តែច្រើននាក់ ទាំង២ពួកត្រូវជាប់កិច្ចប្រាស្រ័យគ្នាជាញឹកញាប់ ។

មនុស្សប្រាស្រ័យគ្នាដូច្នោះហើយ ក៏តាំងមានទំលំនៅៗ ជាមួយគ្នាជាប់ជាត្រកូល ទទួលភារៈគ្នានិងគ្នាទៅវិញទៅមក ឯជនទិតមក៏បាន សេចក្តីប្រកស្រាន្តដោយមានទីពឹង តែនៅមិនទាន់អស់ សេចក្តីបរិតក្កភិតភ័យបារម្ភទៀតឡើយ ។

លុះអន្លើងតមក មានបរសម្មានបរាភាបញ្ញាទៀវឆ្លាតកើតឡើង ចេះទទៅមានប្រាជ្ញ មាននិស្ស័យ និងមនុស្សជឿជាប្រាកដ ក៏អនុលោមនិយមយកក្បួនទាំងឡាយមកបម្តែងបន្ថែមលើបទចាស់ នាំអតីតហេតុមកថ្លែងឲ្យមនុស្សគួរជឿតាមរបៀបថ្មី គេសន្មតហៅថាអាចារ្យគ្រូបាធ្យាយ កាលណាលោកសាបសូន្យទៅ សាសនានៃគ្រូនោះក៏បែកផ្សាយធំឡើងដោយអំណាចសេចក្តីជឿ គេក៏នាំគ្នាលើកដំកើងគ្រូនៃខ្លួនទុកជាមានឫទ្ធិខ្លាំងពូកែ ( និម្មិតបដិហារបាន ) ដល់សាសនសាយធំទូទៅទៀត មនុស្សលោក

ដែលធ្លាប់ជឿកោតគោរពវង្សសុរនាថមុន ក៏ប្រែត្រឡប់កាន់សាសនាថ្មី តម្កល់ជាគ្រូធំគឺមហាបុរសនោះ ជាអ្នកមានឫទ្ធិពូកែលើសលុបក្នុងលោក ។

សាសនាទាំងឡាយមានលំអានតាមតំណៗមក ក្លាយបែកជាច្រើនពួកមានសណ្ឋានផ្សេងៗគ្នា ពួកមួយប្រៀនប្រដៅកូនពួកខ្លួន តាមបែបដែលខ្លួនយល់ខុសពីពួកដទៃ ម្ល៉ោះហើយកើតទៅជាហរិទ្ធិគ្នា បណ្ដាលឲ្យកើតបដិបក្ខពាស់ទទឹងគ្នា ដោយប្រកាន់ថាខ្លួនត្រូវ តែរាល់ប្រាណ ហើយមានអាចារ្យបុគ្គលជាច្រើនបែប ចងជាក្បួនច្បាប់អាគ្រាទីទៃៗ តែក្បួនទាំងប៉ុន្មាននោះក៏គ្មានកំណត់ឲ្យត្រូវគ្នាឡើយ សុទ្ធតែផ្ទុយបដិបក្ខ ដែលជាគ្រឿង ធ្វើខ្លួនឲ្យនឿយព្រួយកប្រយោជន៍គ្មាន ។

ជាសរុបមក ក្នុងរឿងនេះ ឃើញថាបឋមជាតិតាំងមានសេចក្ដីភ័យជាដំបូង ភ័យនេះហើយជាហេតុឲ្យកើតលទ្ធិសាសនាទាំងពួង សាសនាដើមសម្គាល់ថា ព្រះអាទិត្យជាទីតាំង ដោយជឿថា មានអានុភាពប្រកបដោយពន្លឺទ្រទ្រង់លោក ក្រោយមកមិនជឿថា ពន្លឺជាទីនាំឲ្យស្រោកទុក្ខបាន ក៏នាំគ្នាសន្និដ្ឋានថា សុរនាថជាធំជាងព្រះអាទិត្យទៅទៀត ក៏បែកជឿក្នុងបទនោះទៅ លុះតមកឃើញថាគ្រូផ្ទាល់ ក្នុងក្រុមខ្លួន ជាអ្នកមានឫទ្ធិ ក៏តម្កល់គ្រូនោះជាប្រសើរវិញ គឺចេះតែប្រែប្រួលដូច្នេះឯង ។

ហេតុទាំងនេះកើតមកពីមនុស្សលោក មានភ័យ ១ ទិនដំកែក្រែងបង់ទៅ ២ . ទិនព្រលឹងក្រែងអន្ទោលជាតិទៅអនាគតមិនប្រសើរ ក្រែង

មិនបានចូលមកកាន់គតវិញ ម្ល៉ោះហើយក៏យកអ្វីៗមកជាទីពឹង ដើម្បីនឹងបានអាត្មាឲ្យស្ថិតស្ថេរ មកតម្កល់កិច្ចទាំងឡាយឲ្យប្រតិបត្តិជាដាច់ខាត ហើយលើកហេតុផ្សេងៗមានមហិទ្ធិការ មានក្រិត្យច្បាប់ទុកជាកងអាជ្ញា បង្ខំឲ្យប្រតិបត្តិតាម ។

ហេតុទាំងនេះ ជាគតិលោកបង្កើតបានដោយសេចក្តីជឿ គួរគប្បីពិចារណានូវហេតុនិងបច្ច័យមកផ្ទឹមគ្នា គង់ឃើញច្បាស់ក្នុងគំនិតដែលប្រព្រឹត្តនូវកិច្ចទាំងប៉ុន្មាន ដោយបញ្ញាត្រិះរិះមិនខាន ។ សេចក្តីបញ្ញាដែលពិចារណានោះ គប្បីត្រូវគិតថា ផ្លូវប្រតិបត្តិទាំងប៉ុន្មាន តើនឹងយកបែបណាជាផ្លូវនឹងនាំទៅកាន់ប្រយោជន៍អ្វី តើចម្រើនដល់ខ្លួនទៅយ៉ាងណា ។ល។

តាមយោបល់ខ្ញុំ ដែលបានសង្កេតមក ឃើញថា មានក្បួនខ្លះ ដែលជាក្បួនឲ្យប្រព្រឹត្តកិច្ចនមស្សការឥតគំហើ គប្បីចាត់ថាជាក្បួនមិនប្រសើរ ព្រោះជាកិច្ចប្រព្រឹត្តឥតពិចារណា ហើយនាំឲ្យបិទផ្លូវសិក្សា ដែលជាការមានប្រយោជន៍ក្នុងលោក ។

បញ្ញាជាគ្រឿងភ្លឺ ដូចប្រទីបក្នុងងងឹត ជាផ្លូវនៃអ្នកប្រាជ្ញនាំឲ្យយល់ហេតុផ្សេងៗ ជាខ្លឹមសារនៃការដែលខ្លួនធ្វើ ។



# សេចក្ដីបង្ហាញប្រយោជន៍(១)

របស់អ្នកឧកញ៉ាពិនិត្យវោហារ ជួន · ហ៊ឹល ទីអគ្គលេខាធិការកុង្ស៊ី

សេនាបតីបានតែង ដើម្បីពន្យល់សេចក្ដីចំរើនរបស់ស្រុក

---

តាំងពីបុរាណរៀងមក បណ្ដាជនខ្មែរច្រើនតែចង់ឲ្យកូនទៅចូលធ្វើក្នុងរាជការ ដើម្បីឲ្យបានយសសក្ដិធំៗគោរម្យងារ ព្រោះគិតឃើញថា កូនខ្លួនបានចូលធ្វើជាខ្ញុំរាជការ នោះខ្លួននឹងបានរាជការជាទីពឹង បណ្ដាជនឯទៀតនឹងញញើតកោតខ្លាចដល់ខ្លួនផង សេចក្ដីយល់ឃើញដូច្នេះជាគាប់ប្រសើរណាស់ បានជាសព្វថ្ងៃនេះសង្កេតទៅឃើញថាពួកបណ្ដាជនស្ទើរតែទាំងអស់ ខំរៀនសូត្រគ្រប់សាលាក្នុងព្រះនគរក្រុងកម្ពុជា ហើយលុះចេញពីសាលារៀនភ្លាម ទោះបានសំបុត្រសំគាល់បឋមសិក្សាក្ដី ទោះបានសញ្ញាប័ត្រក្ដី ក៏រត់ចូលគ្រប់ខ្លួន សុំធ្វើរាជការជាមន្ត្រីគ្រប់ដំណែង ព្រោះយល់ជាក់ថា ធ្វើក្នុងរាជការជាជាងធ្វើក្នុងរបរការឯទៀត ពិតមែនតែសេចក្ដីយល់ឃើញដូចមានខាងលើនេះជាគាប់ប្រសើរ តែក្នុងស្ថាននេះគួរឲ្យសង្កេតឲ្យនាំមួន ជាប្រយោជន៍ស្រុកនៅគ្រប់នគរ មិនមែនមកតែពីរបរក្នុងរាជការទេ គួរឲ្យគិតថាប្រយោជន៍ស្រុកនិមួយៗ មកពីកម្លាំងនៃរបរគ្រប់ជំពូក ដូច្នេះគួរឲ្យគិតបង្វិលសេចក្ដីប្រាថ្នារបស់បណ្ដាជនឲ្យជួយគ្នាទៅវិញទៅមក បែរមករករបរចំការដំណាំសិប្បការនិងពាណិជ្ជការ

---

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយា ក្បាលលេខ ៦ ឆ្នាំ ១៩២៦-២៧ ។

ដើម្បីឲ្យនគរមានសង្ឃឹមទីពឹងលើកម្លាំង គ្រប់ស្ថានរបស់គណាប្រជានុ-កស្ត្រទាំងអស់ ព្រោះក្នុងព្រះនគរសព្វថ្ងៃនេះ បានសង្កេតទៅឃើញថា បណ្ដាកស្ត្រចិនយួននិងប្រទេសក្រៅដទៃឯទៀត ឃើញខំធ្វើរបរពាណិជ្ជ-ការគ្រប់ជំពូក ជាមាំមួនពិតប្រាកដណាស់ ហើយកម្លាំងដែលប្រឹងទៅប៉ុន្មានៗ ឃើញបង្កើតឲ្យមានផលគាប់ប្រសើរបានចម្រើនទាំងភោគសម្បទ សឹងតែកល់ខ្លួន ដូចជាការរបរជំនួញឈើគ្រប់យ៉ាងនេះជារបរធំសំខាន់មួយនៅក្នុងព្រះនគរ ហើយទាំងការរបរនេសាទត្រី ព្រោះក្នុងព្រះនគរយើងឈើមានតម្លៃក៏សម្បូណ៌ ខាងនេសាទសោតក៏សឹងសម្បូណ៌ ហើយការរបរទាំងពីរជំពូកនេះ ក៏ចម្រើនបានដោយងាយតាមសមគួរ ឯងបែរទៅរបរសិប្បិយការវិញក៏មានការធ្វើច្រើន ព្រោះក្នុងព្រះនគរយើងទើបនឹងបង្កើតរបរថ្មីៗ អ្នកដែលមានគម្រិះប្រាជ្ញា ក៏រកការធ្វើក្នុងរបរនេះបានដោយងាយ ។

បែរមកច្បារដំណាំវិញនោះ ដីក្នុងព្រះនគរក៏មានផលច្រើន តែបើអ្នកដែលដីនោះមានគំនិត ធ្វើឲ្យដីនោះបានផលច្រើនតទៅទៀតដោយយកជីមកលាយផ្សំតាមសមគួរ ក៏សឹងតែល្អ ដូច្នេះបើសង្កេតឲ្យជ្រៅទៅនោះគួរឲ្យបណ្ដាជនខ្មែរ ខំប្រឹងធ្វើការរបរសិប្បិយការច្បារដំណាំនិង-ពាណិជ្ជការដែលជារបរសំខាន់ក្នុងព្រះនគរ ហើយគួរទូន្មានកូនចៅឲ្យទៅរៀនចំណេះវិជ្ជាខាងឯរបរទាំងនេះ ព្រោះការរបរទាំងនេះជាសេចក្ដី

សង្ឃឹមក្នុងព្រះនគរទៅឯអនាគតកាលមុខពុំខាន ។

បើបណ្ដាជនខ្មែរទាំងអស់ គិតឃើញសេចក្ដីដូចមានអធិប្បាយខាងលើនេះ នោះនឹងនាំឲ្យព្រះនគរបានជឿនលឿនតទៅមុខទៀត ដោយបានចម្រើនក្នុងការនេះជាពិតប្រាកដ ហើយធ្វើដូច្នេះមិនមែនតែប្រយោជន៍អ្នកមានរបស់ទ្រព្យទេ គឺជាប្រយោជន៍នៃអ្នកមានចំណេះវិជ្ជា ហើយនិងអ្នកខ្សត់ក្រដែលមានតែកម្លាំងជួយក្នុងការរបរនេះ ។

ជួង-ហាល



# ធម៌ពុទ្ធជ័យមង្គល(១)

គឺ ឧកញ៉ាសុត្តន្តប្រីជា ឥន្ទ ប្រែចេញពីបាលី ហើយចងជាពាក្យកាព្យ

ព្រះគ្រូសំសត្ថា ជួន-ណាត គ្រូបង្រៀនសាលាបាលីជាន់ខ្ពស់ និងព្រះគ្រូ

វិមលបញ្ញា អ៊ុម-ស៊ូរ អាចារ្យក្នុងព្រះរាជបណ្ណាល័យកម្ពុជា

បានផ្ទៀងផ្ទាត់កែសម្រួលត្រឹមត្រូវឡើង

## ពុទ្ធជ័យមង្គល

១. ពាហុំ សហស្សមភិនិម្មិតសាវុធន្តំ គ្រីមេខលំ
ឧទិតឃោរសសេន មារំ ទានាទិធម្មវិធិនា
ជិតវា មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គ-
លានិ ។

ព្រះមុនិន្ទលោកាចារ្យ ផ្ចាញ់ក្រុងមារចិត្តមោហន្ធ និម្មិតដៃមួយពាន់ កាន់សស្ត្រាវុធនានា ។ ជិះគ្រីមេខលជាតិ កោញ្ចនាទខ្លះពេសុធា ព្រមដោយមារសេនា ពន្លឺកលាន់កងស័ព្ទសូរិន្ទ ។ ដោយធម្មវិធី ទានបារមី ជាប្រធាន ក្រុងមារចាញ់ទ្រង់ញាណ ប្រណម្យកាយថ្វាយវន្ទា ។ ជ័យ-មង្គល ចូរមានដល់អ្នកគល់គ្នា ដោយតេជៈជ័យា ព្រះឈ្នះមារគ្រោះនោះហោង ។

---

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយា ក្បាលលេខ ៥ ឆ្នាំ ១៩២៦-២៧ ។

២- មារាតិរេកមភិយុជ្ឈិតសព្វរត្តឹ ឃោរម្បនាឡ-
វកមក្ខមថទ្ធយក្ខំ ខន្តីសុទន្តវិធិនា ជិតវា
មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ។

ព្រះមុនិន្ទពិននាយក ផ្ចាញ់អាឡវកយក្ខឃោរឃៅ រឹងរូសមិនគាំង នៅ ក្នុងខន្តីគុណសត្យា ។ រហូតអស់រាត្រី ព្រះជិនស្រ័ចទ្រង់យុទ្ធនា ក្រៃលែង ក្រុងមារ ក្នុងបឋមសម្ពោធិ ។

ដោយព្រះពិជ្ញាណ ទ្រង់ទូន្មានដោយខន្តី ញ៉ាំងចិត្តអសុរី ឲ្យបង់ព្យសពុះវន្លា ។ រីជ័យមង្គល ចូរមានដល់អ្នកកល់គ្នា ដោយតេជៈជ័យា ព្រះឈ្នះអាឡវយក្ខហោង ។

៣- នាឡាគិរឹ គជវរំ អតិមត្តភូតំ ទាវគ្គិចក្កម-
សនីវ សុទារុណន្តំ មេត្តម្ពុសេកវិធិនា ជិតវា
មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ។

ព្រះមុនិន្ទពិនជិនស្រី ផ្ចាញ់ដំរីឈ្មោះនាឡា គិរីវរគជា ដំហានក្លាចុះប្រេងព្រេច ។ សាហាវឆាវឆេះក្រៃ ដូចភ្លើងព្រៃឆេះកំទេច មុតដូចចក្រក្រុតពេជ្រ ខ្លាំងដូចកាំអសនី ។ ដោយព្រះពិធីស្រប ស្រោចទឹកអប់គឺបារមី មេត្តាព្រះជិនស្រី ញ៉ាំងដំរីឲ្យជ្រះថ្លា ។ រីជយមង្គល ចូរមានដល់អ្នកកល់គ្នា ដោយតេជៈជ័យា ព្រះឈ្នះនាឡាគិរី ។

៤. ឧក្ខិត្តខគ្គមតិហត្ថសុទារុណន្តំ ធាវន្តិ យោ
ជនបថង្គុលិមាលវន្តំ ឥទ្ធីភិសំខតមនោ ជិតវា
មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ៗ

ព្រះមុនិន្ទពិនលោកត្រៃ មានព្រះទ័យធ្វើបាដិហារ ផ្ចាញ់ចោរអង្គុលិ-មាល មានខកម្រងគឺម្រាមដៃ ៗ នៃមនុស្សដែលគាត់កាត់ មកដោតពាក់ជាមាល័យ អន់អាចកំណាចក្រៃ ដំរាទដៃស្ទាត់ប្រហារ ៗ កាន់ដាវដើរគ្រវី ដេញព្រះមុនីសាស្ដាចារ្យ ចម្ងាយផ្លូវកន្តារ កណ្ដាលព្រៃបីយោជន៍ណា ៗ ជ័យមង្គល ចូរមានដល់អ្នកកល់គ្នា ដោយតេជៈជយា ព្រះឈ្នះអង្គុ-មាល ៗ

៥- កត្វាន កដ្ឋមុទរំ ឥវ គព្ភិនិយា ចិញ្ចាយ ទុដ្ឋ-
វចនំ ជនកាយមជ្ឈេ សន្តេន សោមវិធិនា ជិត-
វា មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ៗ

ព្រះមុនិន្ទមានព្រះភាគ ផ្ចាញ់ទុស្ដពាក្យនាងចិញ្ចា អំពើធ្វើដូចជាស្រីមានគភ៌ចាល់ពើសពោះ ៗ យកឈើធ្វើជាកូន ពន្ធពោះខ្ទង់ពោលប្រគោះ ព្រះពុទ្ធឈ្នះកាលនោះ ដោយសមាចារកើត ៗ រម្ងាប់ពាក្យបណ្ដាល នាកណ្ដាលជនប្រុសស្រី ចិញ្ចាចាញ់បារមី គឺសច្ចំពាក្យសត្យា ៗ ជ័យមង្គល ចូរមានដល់អ្នកកល់គ្នា ដោយតេជៈជយា ព្រះសាស្ដាឈ្នះចិញ្ចា ៗ

៦. សច្ចំ វិហាយមតិសច្ចកវាទកេតុំ វាទាភិរោ-
បិតមនំ អតិអន្ធភូតំ បញ្ញាបទីបជលិតោ ជិតវា
មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ។

ព្រះមុនិន្ទពិនអ្នកប្រាជ្ញ រុងរឿងស្វាង ដោយបញ្ញា ផ្ចាញ់សច្ចកជានិគ្រន្ថៈក្រៅពុទ្ធវិន័យ ។ អធ្យាស្រ័យលះបង់ពាក្យសត្យត្រង់តាមគាប់ចៃ សរសើរខ្លួនឯងថៃ លើកកម្ពស់ដូចដងទង់ ។ បង្កើតម្ទរងងឹត ដោយពោលឥតពាក្យទៀងត្រង់ ព្រះទ្រង់កំចាត់បង់ ដោយប្រទីបគឺបញ្ញា ។ ជ័យមង្គល ចូរមានដល់អ្នកកាល់គ្នា ដោយតេជៈជយា ឈ្នះសច្ចកនិគ្រន្ថ ។

៧ នន្ទោបនន្ទភុជគំ វិពុធំ មហិទ្ធិំ បុត្តេន ថេរភុជ-
គេន ទមាបយន្តោ ឥទ្ធូបទេសវិធិនា ជិតវា មុនិ-
ន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ។

ព្រះមុនិន្ទពិតទ្រង់ញាណ ញុំាងមោគ្គល្លានមានអំណាច ឲ្យប្លែងជានាគរាជ ទៅទូន្មានក្បាលកុដក្ត ។ ឈ្មោះនន្ទោបនន្ទចិត្តមោហន្ធរឿង ឫទ្ធិរក្ត ទិដ្ឋិកាចទ្រនង់ ទ្រង់ផ្ចាញ់ដោយពិធីឈ្នះ ។ ឥទ្ធិឧបទេស ឫទ្ធិវិសេសដល់មោគ្គល្លាន ឫទ្ធិនាគអន្តរធាន ទុនចុះចាញ់ព្រះបស្តា ។ ជ័យមង្គល ចូរមានដល់អ្នកកាល់គ្នា ដោយតេជៈដេរ ព្រះភគវ័ឈ្នះនាគរាជ ។

៨. ទុគ្គាហទិដ្ឋិភុជគេន សុទដ្ឋហត្ថំ ព្រហ្មំ វិសុទ្ធិ-

ជុតិមិទ្ធិពកាភិធានំ ញាណាគទេន វិធិនា ជិ-

តវា មុនិន្ទោ តន្តេជសា ភវតុ តេ ជយមង្គលានិ ។

ព្រះមុនិន្ទពិនគោតម ផ្ចាញ់មហាព្រហ្មឈ្មោះពកា សម្គាល់ថាអាត្មា រុងរឿងដោយគុណវិសុទ្ធិ ។ ដៃកាន់អាសិរពិស គឺចិត្តទ្រឹស្ដិដ៏ប្រមុត កាន់ខុសផ្លូវសម្ពុទ្ធ មិនលើកលាកលះបង់ព្រាណ ។ ទ្រង់ឈ្នះដោយពិធី ឱសថវិសេសសម្រាន្ត ផ្សំត្រូវតាមសន្តាន គឺព្រះញាណប្រោសទេសនា ។ រីជ័យមង្គល ចូរមានដល់អ្នកល្អ ដោយតេជះផងហ្នា ឈ្នះព្រហ្មាឥតមានហ្មង ។

ឯតាបិ ពុទ្ធជយមង្គលអដ្ឋគាថា យោ វាចនោ-

ទិនទិនេ សរតេ មតន្ទី ហិត្វាននេកវិវិធានិ ចុបទ្ទ-

វានិ មោក្ខំ សុខំ អធិគមេយ្យ នរោ សបញ្ញោ ។

យោនរជនឯណា គប់បញ្ញាប្រាសកង្វល់ ឧស្សាហ៍សាងតាមសីល សូត្រទុកព្រះធម៌ថ្ងៃ ។ គឺគាថាប្រាំបីបទ នេះកំណត់ឈ្មោះពុទ្ធជ័យ ទំសូត្រសព្វៗថ្ងៃ កើតមង្គលជានិរន្តរ៍ ។ សោនៈនរជននោះ បានដោះ រោគអាសន្ន ឧបទ្រពអនេកលន់ មានប្រការផ្សេងៗផង ។ ទីនដល់ធម៌ក្សេមក្សាន្ត គឺព្រះនិព្វានសុខគន្ធ លែងទុក្ខទាំង ៤ កង ដោយពុទ្ធជ័យមង្គលនេះ ។

ចប់ពុទ្ធជយមង្គលប្រែតែប៉ុណ្ណេះ

# អារាធនាធម្មកថិកឲ្យសម្តែងធម៌(១)

គឺឧកញ៉ាសុត្តន្តប្រីជា ឥន្ទ ប្រែចេញពីបាលីហើយចងជាពាក្យទុកមក

ព្រះគ្រូសំសត្ថា ជួន - ណាត គ្រូបង្រៀនក្នុងសាលាបាលីជាន់ខ្ពស់

និងព្រះគ្រូវិមលបញ្ញា អ៊ុម - ស៊ូរ អាចារ្យក្នុងព្រះរាជបណ្ណាល័យកម្ពុជា

បានទទួលផ្ទៀងផ្ទាត់កែសម្រួលឡើង ។

## ធម្មទេសនាយាចនកថា

### ពាក្យសូមអារាធនាលោកអ្នកសម្តែងធម៌

ព្រហ្មា ច លោកាធិបតី សហម្បតី
កតញ្ជលី អនធិវរំ អយាចថ
សន្តីធ សត្តាប្បរជក្ខជាតិកា
ទេសេតុ ធម្មំ អនុកម្បិមំ បជំ ។
សទ្ធម្មគេរំ វិធយញ្ច ការយំ
សុត្តញ្ច ពន្ធំ អភិធម្មធម្មំ
អាគោជយន្តោ ចតុសច្ចឧណ្ហំ
បញ្ញោន នេយ្យ បរិសាយ មជ្ឈេ ។
ឯវំ សហម្បតី ព្រហ្មា កតវន្ទំ អយាចថ
តុណ្ហីភាវេន តំ តុទ្ធោ

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយា ក្បាលលេខ ៤ ឆ្នាំ ១៩២៦-២៧ ។

ការុញ្ញជាតិកសយ ឥន្ទហារដ្ឋាយ ឆាទេន
មិគជាយំ តតោតតោ

បញ្ចវគ្គានយោ ទេយ្យ អមំ ឆាយេសិ ជម្មតោ
តតោ បក្ខិ សម្មុទ្ទោ អទ្ធជា ជម្មទេសជំ
មាយស្សាធិ ទេសេសិ សត្ថាធំ អន្តសិទ្ធកំ ៗ
តេន សាធុ អយ្យោ ភន្តេ ទេសេតុ ជម្មទេសជំ
សញ្ញាយិជ បរិសភយ អនុកម្បម្បិ កាតវេ ៗ

គ្រានោះសហម្បតី ព្រហ្មជាឥស្សរលោក ចូលគាល់ព្រះសាស្តា លើកហត្ថាសំពះ ៗ ហើយពោលពាក្យទូលថា សូមករុណាស្តេច ទ្រង់ជ្រាប ដ្បិតសត្វអន់ខន់ខាប ឲ្យពួលតាពបាបក្រៃក្រាស់ ៗ ខន្តិព្រះធម៌ថ្លៃ ជានិស្ស័យបច្ច័យច្បាស់ ឥឡូវទ្រង់បានត្រាស់ ត្រេកអរណាស់ ពុំកន្តើយ ៗ សត្វខ្លះក្រាស់ដោយកាម មិនយល់តាមត្រៃលក្ខណ៍ឡើយ ឥឡូវយល់ខ្លះហើយ ដោយអំណាចព្រះមានបុណ្យ ៗ√ បើបានស្តាប់ទេសនាបញ្ញាក្លាខ្លាំងលើសមុន សូមព្រះដ៏មានបុណ្យ ទ្រង់ទ្រមន្តត្រាស់ទេសនា ៗ ប្រោសសត្វបំបាត់សោក ចាំងកងកេតរូបតណ្ហា ដងឹតប្រែជ្រះថ្លា កើតបញ្ញាកិះយ្យាយល់ ៗ ត្រៃលោកគោកព្រៃលក្ខណ៍ សង្សារចក្រវិលមិនដល់ អវិជ្ជាក្ររួបសគល់ ជាបច្ច័យនៃសង្ខារ ៗ នាំសត្វឲ្យសោកសោ លិចលង់ទៅក្នុងសង្សារ បញ្ញាមារមោហន្ធការ រឹតរុំហុំមជុំជាប់នៅ ៗ

ហេតុនោះសូមព្រះអង្គ ប្រោសប្រោចស្រង់ដាក់សំពៅ ចម្លងសត្វឆ្ពោះ
ទៅ កាន់ត្រើយត្រាននិព្វានឆាយ ។ ដូចកល់ប្រទីបធំ សាយត្រសំភ្លឺ
ព្រោងព្រាយ បំភ្លឺសត្វទាំងឡាយ ឲ្យសប្បាយក្សាន្តភិរម្យ ។ ព្រះសទ្ធម្ម
ជាស្គរជ័យ ព្រះវិន័យជាកងធំ ព្រះសូត្រជាខ្សែរុំ ព្រះអភិធម្ម
ជាស្បែកដាស ។

អរិយសច្ចជាអន្ទង់ សម្រាប់ជូនឲ្យឮច្បាស់ សត្វលោកងោកងុយ
ណាស់ ឮស្គរជាសក្រោកឡើងបាន ។ បរិស័ទ ៤ ចំពូក ដូចផ្កាឈូក
ក្នុងផលដ្ឋាន ខ្លះផុសចាំសូរ្យបាន រះនិងរីកដោយរស្មី ។ ព្រះធម៌ជាសូរ្យ
សែង រះឡើងបែងចាំងរង្សី បំភ្លឺលោកទាំងបី ឲ្យយល់ផ្លូវបានសុខា ។

សហម្បតីព្រហ្ម ឱនបង្គំអារាធនា សម្តេចព្រះភគវា ដោយគាថា
យ៉ាងនេះឯង ។ ព្រះពុទ្ធទ្រង់អនុកូល ព្រមទទួលនិងសម្តែង ដោយគុណ-
ភាពថ្លៃង តាមការៈគុណករុណា ។ ទើបក្រោកចាកទីនោះ កន្ត្រាឆ្ពោះព្រៃ
មិគទា យាងចេញចរលីលា ពីទីនោះដោយព្រះបាទ ។ ញ៉ាំងសត្វចូល
ក្នុងចក្រ មានបញ្ចវគ្គីយ៍ជាអាទិ៍ ឲ្យផឹកអម្រឹតជាតិ រស់និព្វានតាមធម្មតា ។
ចាប់ដើមពីនោះឯង ទ្រង់សម្តែងធម៌ទេសនា ធ្វើពុទ្ធកិច្ចា អស់វស្សាសែ-
សិបប្រាំ ។ ពុំថយពុំបន្ធូរ ប្រយោជន៍យូរអង្វែងឆ្នាំ សម្រេចបុញ្ញកម្ម ដល់

សព្វសត្វទាំងគតត្រៃ ។ ហេតុនោះឥឡូវនេះ យើងខ្ញុំនេះសាទរក្រៃ
បពិត្រព្រះគុណថ្លៃ សូមនិមន្តប្រោសទេសនា ។ អនុគ្រោះពួកបរិស័ទ
ដែលជាប់ខាត់ដោយមោហា ឲ្យកើតមានបញ្ញា ប្រាកដនាទីនេះហោង ។



# សេចក្ដីរំឭកគុណ លោកឡឺរ៉េស៊ីដង់ត៍ ស៊ូប៉េរីយ៉េបូដូកាំង ដែលបង្កើតព្រះរាជបណ្ណាល័យក្រុងកម្ពុជាធិបតី(១)

ក្នុងសម័យដែលលោកឡឺរេស៊ីដង់ត៍ស៊ូប៉េរីយ៉េបូដូកាំង ទើបចេញពីទីអធិបតីប្រូតិកតូរ៉ាក្រុងកម្ពុជាធិបតី ទៅក្រុងបារាំងសេសវិញ ជាស្រេចដោយដល់កំណត់ត្រូវឈប់រីត្រែត ហើយបានតាំងជាគូវែរណឺហ្សេណេរ៉ាល់កិត្តិយសនេះ ស្ដាយលោកជាទីបំផុតហើយសូមអំណរព្រះតេជគុណលោកដោយសុចរិត ពីគំនិតខ្ពស់ដែលលោកបានគិតបង្កើតព្រះរាជបណ្ណាល័យ ហើយបានជួយទំនុកបំរុងជាមាំមួនឥតអាក់តាំងពី បឋមរៀងមក បានចម្រើនដូចសេចក្ដីប្រាថ្នាក្នុងព្រះរាជបណ្ណាល័យ ទំនងមានប្រយោជន៍ច្រើនលឿនទៅមុខ យើងខ្ញុំជាតិខ្មែរៈទាំងអស់ ទាំងអ្នកបព្វជិតនិងព្រះរាជវង្សានុវង្ស នាម៉ឺនសព្វមុខមន្ត្រី និងអស់អ្នកទាំងពួង សូមឲ្យលោកគូវែរណឺហ្សេណេរ៉ាល់កិត្តិយសបូដូកាំង ទទួលសេចក្ដីដែលយើងខ្ញុំស្គាល់ព្រះតេជគុណលោកជាពន្លឺក្នុងឱកាសនេះ និងសព្ទសាធុការពរដ៏ប្រសើរគ្រប់ប្រការ ដែលយើងខ្ញុំខ្ពង់សជូនលោកនិងញាតិដ៏ប្រពៃ របស់លោក ។

---

១- អត្ថបទនេះ ស្រង់ពី កម្ពុជសុរិយា ក្បាលលេខ ៧ ឆ្នាំ ១៩៤៦-៤៧ ។

ប៉ុន្តែសេចក្តីស្តាយនេះ បានស្រាកខ្លះ ដោយក្រុងកម្ពុជាធិបតីមានសំណាងល្អ ព្រោះបានលោកឡឺរ៉េស៊ីដង់តស៊ូប៉េរីយ៉េ ឡឺហ្វុលមកជាអធិបតីនៃប្រូតិកតូក៏ ជាជំនួសលោកបូដូកាំង ហើយលោកឡឺរ៉េស៊ីដង់តស៊ូប៉េរីយ៉េឡឺហ្វុលជាមន្ត្រីធំ ប្រកបដោយគម្រិះប្រាជ្ញាភ្លឺថ្លា និងសុចរិតស្លូតត្រង់ជាមិត្តដ៏វិសេសនឹងក្រុងកម្ពុជាធិបតីជាយូរហើយ យើងខ្ញុំមានសេចក្តីត្រេកអរទទួលគំនាប់លោកដោយគោរពសោមនស្ស សូមចម្រើនសព្ទសាធុការពរសោមនស្ស សូមចម្រើនសព្ទសាធុការពរដល់លោក ដែលអញ្ជើញមកឲ្យបានសេចក្តីសុខគ្រប់ប្រការ ហើយយើងខ្ញុំជឿជាប្រាកដថា លោកនឹងយកចិត្តទុកដាក់ធ្វើរាជការ ដោយព្រមព្រៀងនឹងរដ្ឋបាលខ្មែរ ឲ្យចម្រើនប្រយោជន៍ព្រះនគរជាទីចូតរៀងទៅ ឲ្យសមនឹងព្រះកិត្តិយសព្រះមហានគរបារាំងសេសដែលទំនុកបំរុងដោយសុចរិត ។

ទ្រង់អធិបតីក្នុងរាជការព្រះរាជបណ្ណាល័យ

ក្រុមព្រះ ឧភោត្តម កាណុវង្ស ទីអគ្គមហាសេនាធិបតី ។



# វិរិយកថា

## គឺសេចក្ដីអធិប្បាយអំពីព្យាយាម(១)

ប្រជាជនក្នុងលោក ដែលតាំងកសាងផ្ដើមឡើង ជាបឋមនោះ គឺរៀនសិល្បសាស្ត្រទាំងពួង ឬស្វែងរកទ្រព្យសម្បត្តិដោយហត្ថកម្មជាដើម អាស្រ័យដោយអ្វី ជាអាស្រ័យដោយវិរិយព្យាយាម តែប្រាសចាកវិរិយហើយ ទឹងកសាងធ្វើការអ្វីមិនសម្រេចទាំងអស់ វិរិយនេះជាសាធារណទូទៅ លើវិជ្ជាទាំងពួង ហើយជាទីកាត់បង់នូវខ្ជាប់ខ្ជិល ច្រអូសនេះចេញ តាមធម្មតា មនុស្សកើតមកគ្មានវិជ្ជា នោះហៅថាល្ងង់ងឹត លុះដល់មានព្យាយាមរៀនសូត្រដោយមាតាបិតា ឬកដការជួយឧបត្ថម្ភដាស់តឿនទើបកើតវិជ្ជាចេះដឹងឡើង វិជ្ជានេះជាទីបង្កើតប្រាជ្ញានិងទ្រព្យសម្បត្តិ ហេតុនេះមនុស្សយើងកុំស្ថិតនៅជាមនុស្សធម្មតា គឺកើតឡើងល្ងង់នៅជាល្ងង់ ក្រនៅជាក្រនោះឡើយ ត្រូវប្រែទៅតាមសម័យដែលកប់ អាចជាល្អពិតយកមកឧបស្ការ ទុកដាក់ក្នុងចិត្តជានិច្ច កិរិយាដែលប្រែប្រួលពីមនុស្សធម្មតាបានដូច្នេះ ត្រូវឲ្យលះបង់ខ្ជិលច្រអូសចេញ ឲ្យមានវិរិយរៀនសូត្រសិល្បសាស្ត្រ និងខំធ្វើការងាររកទ្រព្យសម្បត្តិឲ្យមានឡើង គឺវិជ្ជាឬវត្ថុអ្វីដែលមិនមាន នោះត្រូវព្យាយាមរៀនរកឲ្យមានឡើង បើមានឡើងហើយ ត្រូវព្យាយាមឲ្យរឹតតែចេះដឹងមានច្រើនឡើងតទៅទៀត នេះវិរិយខាងគតិលោក វិរិយគតិធម៌វិញហៅថាសម្មាវាយាមព្យាយាម ដ៏

---

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយា ក្បាលលេខ ៨ ឆ្នាំ ១៩២៦-២៧ ។

ប្រពៃមាន ៤ យ៉ាងគឺ ។

១. អកុសលចិត្ត ឯណាមិនទាន់បង្កើតឡើង ត្រូវព្យាយាមបំបាត់កុំឲ្យបង្កើតឡើង ។

២. អកុសលចិត្ត ឯណាបង្កើតឡើង ត្រូវព្យាយាមលះបង់ចោលចេញ ។

៣. កុសលចិត្ត ឯណាមិនទាន់បង្កើតឡើង ត្រូវព្យាយាមឲ្យមានឲ្យកើតឡើង ។

៤. កុសលចិត្ត ឯណាបង្កើតឡើងហើយ ត្រូវព្យាយាមឲ្យរឹងរឹតតែបង្កើតឡើងតទៅទៀត សិល្បសាស្ត្រខាងលោកខាងធម៌ក្តី ទ្រព្យសម្បត្តិធនធានក្តី កើតមានឡើងដោយការិយារៀនរក ដូចពាក្យចំនៀមថា ចេះព្រោះរៀនមានព្រោះរកតាមសតិទឹងតម្រិះតិចច្រើន ប្រៀបដូចខ្សែស្នូរទឹក បើខ្សែវែងក៏ដឹងជ្រៅ បើខ្សែខ្លីក៏ដឹងកក់តាមភាព វាសនាទឹងបង្អង់ឈប់ពុំបាន ឯការងារមានប្រភេទច្រើនសណ្ឋាន ទឹងធ្វើការមួយមុខៗ អស់ការនោះហើយឈប់ដើរលេងនោះ ហៅថាមិនល្មមទឹងចិញ្ចឹមជីវិតបាន ព្រោះហេតុអ្វី ថាព្រោះខ្ជិលក៏មាន ព្រោះមិនយល់ផ្លូវរកស៊ីនាំឲ្យទុញទាល់គំនិតក៏មាន ដោយហេតុមិនរៀនសិល្បសាស្ត្រខាងជំនួញ ហេតុនេះបានជាសម្តែងថា វីរិយ ជាមូលហេតុឲ្យកើតប្រាជ្ញាក្រាស់ដូចផែនដី តែប្រាសចាកវីរិយហើយ ប្រាជ្ញានោះក៏សាបសូន្យបាត់ទៅ

អធិប្បាយថា តម្រិះវិជ្ជាទាំងពួងត្រូវស្វាធ្យាយឲ្យរឿយៗ តែគ្មានវិរិយស្វាធ្យាយហើយនឹងភ្លេចវង្វេងបាត់ទៅ ប្រៀបដូចជាផ្ទះបើលិចបែកបាក់ត្រូវជួសជុលឲ្យធាប់ បើមិនជួសជុលនឹងវិនាសខូចទៅជាអសារឥតការម្យ៉ាងទៀត ដូចជារូបកាយឬវត្ថុជាបរិក្ខារ ត្រូវតែជម្រះឲ្យស្អាតកុំឲ្យក្អែលឬច្រេះស្នឹម ទើបបម្រើនស្ថិតស្ថេរចិរកាលតទៅ នេះមានឧបមាដូចម្ដេច មានឧបមេយ្យដូចតម្រិះវិជ្ជាដូច្នោះឯង ។

សម័យនេះនឹងចង្អុលឲ្យឃើញថាវិរិយភ្ញាក់ក្នុងស្រុកប្រទេសណា ស្រុកប្រទេសនោះច្រើនមានភោគសម្បទ និងសិល្បសាស្ត្រប្រើការគ្រប់យ៉ាងដែលត្រូវការក្នុងលោកសមដូច ពុទ្ធភាសិតថា ពាហុសច្ចញ្ច សិប្បញ្ច ឯតម្មង្គលមុត្តមំ អធិប្បាយថា សេចក្ដីស្ដាប់ច្រើន និងរៀនយកនូវសិល្ប-សាស្ត្រជាមង្គលដ៏ឧត្តម ជាទីឲ្យចម្រើនក្នុង លោកនិងបរលោក ភាសិតនេះជាពាក្យប្រដៅវិសេសណាស់ យើងគប្បីប្រតិបត្តិតាមកុំធ្វេសប្រហែស ដើម្បីបំបាត់នូវពាក្យពោលផ្សំនឹងខ្ជិល ជាចំរៀនចំរកអំពេកស្រេចនៅសំណាងនោះចេញ ព្រោះយើងមើលមិនឃើញទៅខាងមុខដូចម្ដេច សូម្បីព្រះពុទ្ធអង្គកាលពុំទាន់បានត្រាស់ក្នុងបច្ឆិមជាតិនេះ ទ្រង់មានវិរិយធ្វើទុក្ករកិរិយា ៦ ព្រះវស្សា ទើបបានត្រាស់មិនបាននៅផ្ញើស្ងៀមចាំសំណាងនោះឡើយ ។

ហេតុនេះត្រូវតាំងវិរិយរៀនវិជ្ជាឬធ្វើការងារឲ្យធាប់ៗ ទើបបាន

សម្រេចប្រយោជន៍ ដោយខំផ្សំនឹងសំណាងកសាងនោះឯង សមដូច
ការគិតថាឲ្យមានវីរិយំ សច្ចំ កុសល ៗ ន័យមួយទៀតអ្នកមានវីរិយត្រូវ
ឲ្យប្រកបដោយឥរិយាបថ ៤ យ៉ាង គឺ ដេក ដើរ ឈរ អង្គុយឲ្យស្មើគ្នា
តែឲ្យច្រើនជ្រុលទៅដោយឥរិយាបថណាមួយនោះ នឹងបង្កើតឡើងនៅ
សមុដ្ឋានរោគ តែប្រទេសយើង មិនសូវមានអ្នកណាព្យាយាមជ្រុលពេក
នោះទេ ច្រើនតែរៀនចេះល្មមប្រើការបានសន្មតថាចេះ ហើយក៏ឈប់ទៅ

ឯអ្នកធ្វើការងារក៏ដូចគ្នា ច្រើនពោលពាក្យកន្តប្រឡំផ្សំនឹងខ្ជិលថា
កុំលោភពេក វីផ្លូវធ្វើការងាររកបេរ គឺដួញព្រៃ ធ្វើស្រែចំការចម្ការដំណាំ
ជាដើម នេះឈ្មោះថាធ្វើការប្រាសចាកទោស ហៅថាសម្មាអាជីវ ចិញ្ចឹម
ជីវិតដោយប្រពៃ ឯហៅថាលោភនោះ គឺចិញ្ចឹមជីវិតដោយមិច្ឆាជីវ មាន
លួចទ្រព្យគេជាដើម ៗ

ឯកិច្ចដែលវីរិយធ្វើការងារមិនធ្វេសប្រហែស ប្រយ័ត្នមិនឲ្យខូចខាត
នេះជាមង្គលដ៏ប្រសើរ ក្នុងឥធលោកនិងបរលោក ៗ

សម្ដែងមកតាំងពីដើមបទ រហូតដល់ចប់ផុតបទ សន្មតថាចប់ដោយ
សង្ខេបនេះដើម្បីឲ្យឃើញថាសិល្បសាស្ត្រនិងគោលសម្ព័ទ បង្កើតឡើងនាំ
ចម្រើនដល់ស្រុកនគរ នេះដោយវីរិយ វីរិយៈនេះជាទីទ្រទ្រង់នូវវិជ្ជានិងសម្បត្តិ
កំចាត់បង់នូវល្ងង់ខ្លៅ និងខ្សត់អត់ឃ្លានថោកថយ ជាដែនឲ្យរុងរឿងទៅ
អនាគតកាល ៗ

អ្នកឧកញ៉ា សុភាធិភធិ-ស៊ូរ

# ពាក្យកាព្យ

## រឿងព្រះអង្គម្ចាស់[១]

ឧកេត្តម-កាណុវង្ស

ឲ្យឃុនរាមតេជះ សេកា ជាអ្នកតែងសេចក្តី

ហើយទ្រង់បានជួយពិនិត្យតម្រូវសេចក្តីផង

៙ សិទ្ធិប្រដាប់សម្រាប់ការ នៃអ្នកខេមរាផងទាំងឡាយ
ដែលមានគំនិតគិតខ្វល់ខ្វាយ មើលស្តាប់អធិប្បាយរឿងនេះជា ។
កាលនោះក្នុងរាជ្យព្រះមហាក្សត្រ ព្រះបាទស៊ីសុវត្ថិខត្តិយា
ស្តេចជាចមកុដផុតលោកា បូររដ្ឋកម្ពុជា ។
ដោយបាននៅផលានិសង្ស ព្រះអង្គសាងសីលសព្ទា
ទើបបានថ្កុំថ្កើងឡើងសម្ភារ ពលាអនេកប្លែកណាស់ខ្ញី ។
ថែមបានអំណាចពីរាជការ ប៉ារីសរដ្ឋរាជមេត្រី
ទំនុកបម្រុងជុនផែនដី ចម្រើនសិរីក្នុងសេមា ។
ជួយរៀបនគរទឹកខ្មែរ រៀបផ្ទះសម្បែងថ្នល់ថ្លាផ្សារ
សង់ស្ពានហើយមានសង់សាលា ស្រុកស្រែចំការស្អាតពេកក្រៃ ។
ទីវត្តអារាមតាមធម្មតា បង្កើតសាលារៀនសព្វថ្ងៃ
សំអាតជានិច្ចអចិន្ត្រៃយ៍ ឲ្យគង់និស្ស័យព្រះពុទ្ធា ។

---

១- អត្ថបទនេះ ស្រង់ចេញពីកម្ពុជសុរិយា ក្បាលលេខ២-៣-៦ ឆ្នាំ១៩២៦-២៧ ។

ក្នុងក្រុងភ្នំពេញកំស្អាងស្អាត ជួយផ្លាស់ប្រាសាទមហាកថា
មួយនោះឈ្មោះប្រាសាទទេវា ទីជាប្រជុំខ្ញុំកដការ ។
មួយទៀតទ្រង់ព្រោយកំល្អស្អាត នាមឈ្មោះប្រាសាទចន្ទឆាយា
ចំណាំប្រជាប់ទតធីតា កែកេរកំលំនាំថ្វាយ ។

ប្រាសាទមួយនោះសមសោភី ឈ្មោះកោដទីយទីធេតឆាយ
ចំណាំយានសោយកំសាន្តកាយ សប្បាយជួបជុំខ្ញុំកដការ ។
ដំណាក់ឈ្មោះចរិត្តកិមាលា ថ្កើងថ្កានដំកល់ព្រះខន្ធថ្លា
និងព្រះស់រិទ្ធពីបូកណ៌ ពួកព្រាហ្មណ៍ពលីគាកល់វេលា ។
ដំណាក់ឈ្មោះសម្រាន្តកិរម្យ ប្រជុំស្តេចថ្កានឡើងគជា
អស់ខ្ញុំកដការទៅជុំគ្នា ត្រៀមចាំនៅនាទីនោះណា ។
ទ្រើសទ្រង់ពន្យពេជ្រលេចផ្លេក ៗ ក្បាច់ក្បូរយ៉ាងឯកល្អថ្លៃថ្លា
ដំណាក់ដំណែងតែងតាមការ រចនាស៊ីម៉ងត៍ផ្ចង់យ៉ាងល្អ ។
លានគ្រួសលាយឡាប់ដែកយ៉ាងល្បោយ ដល់ស្ពឹងក្លាយវិស័យថ្ន
ជាប់ជួនមួនមាំសមបរ ដំណយួរទៅនៅវែងឆ្ងាយ ។
យកឈើធ្វើខ្ទះដោយកន្ទែង ដែលជាងតាក់តែងសឹងប្រិតប្រាយ
ចម្លាក់ចម្លែកឯកអំបាយ ល្អជាប់ជៃនអាយឡាយលេខា ។
តំណែងតែងថ្នាំរូបចឹបមាស គំនូរគួរពេសពាសប្រាង្គប្រា

កូនក្រុងក្តីពេញក៏ស្អាងស្អាត ជួយផ្លាស់ប្រាសាទមហាកថា
មួយនោះឈ្មោះប្រាសាទទេព ទីជាប្រជុំខ្ញុំកដការ ។
មួយទៀតទ្រង់ព្រាយក៏ល្អស្អាត នាមឈ្មោះប្រាសាទចន្ទាយា
ចំណាំប្រដាប់ទតធីតា កែកកែវលំនាំថ្វាយ ។

ប្រាសាទមួយនោះសមសោភី ឈ្មោះកោដទ័យទីតើតឆាយ
ចំណាំយានសោយកំសាន្តកាយ សប្បាយជួបជុំខ្ញុំកដការ ។
ដំណាក់ឈ្មោះបរិត្តកិមាលា ហើងថ្កានដំកល់ព្រះខន្ធថ្វា
និងព្រះសរីរធាតុបូកណ៍ ពួកព្រាហ្មណ៍ពលីកាកល់វេលា ។

ដំណាក់ឈ្មោះសម្រាន្តកិរម្យ ប្រជុំស្តេចថ្កានឡើងគជា
អស់ខ្ញុំកដការទៅជុំគ្នា ត្រៀមចាំនៅនាទីនោះណា ។
ទ្រើសទ្រង់ពង្សព្រេជ្រលេចផ្តក ១ ក្បាច់ក្បូរយ៉ាងឯកល្អថ្លៃថ្លា
ដំណាក់ដំណែងតែងតាមការ រចនាស៊ុមឹងក័ផ្លុំយ៉ាងល្អ ។
លានគ្រួសលាយឡាប់ដែកយ៉ាងល្បាយ ដល់សួគ៌ក្រាយវៃស័យថ្ម
ជាប់ជួនមួនមាំសមបវរ ដំណយូរទៅនៅវែងឆ្ងាយ ។
យកឈើធ្វើខ្វះជាយកន្ទុង ដែលជាងតាក់តែងសឹងប្រិតប្រាយ
បម្លាក់ចម្លែកឯកអំបាយ ល្អជាប់ដែនកាយឡាយលេខា ។
គំណែងតែងថ្ងៃរូបទឹបមាស គំនូរគូរកេសពាសប្រាក់ប្រា

ក្រាលសឹងឥដ្ឋពណ៌ដ៏ក្រឡា ក្លាយជាក្បាផ្កាសុខវិស័យ ។
យប់អុជសឹងអគ្គិសនី ក្នុងក្រោមទ្វារនោះច្រើនក្រៃ
ពន្លឺភ្លឺក្បោះស្រស់បំប្រែ ឧបមេយ្យប្រៀបហាក់សែងសុរិយា ។
បើស្អុះមានផ្ទិតស្ទាបកង្ហារ វិលខ្វាល់ហើយដោយរាគា
សម្រាប់សម្រួលព្រះកាយា និងខ្ញុំរាជការផងទាំងឡាយ ។
មិនឲ្យធុញថប់អផ្សុកអ្វី ទាំងប្រុសទាំងស្រីកល់រាងកាយ
កុំមានស្អុះស្អាប់ក្តៅក្រហាយ ក្សេមក្សាន្តសប្បាយក្នុងចិន្តា ។
នាទីចន្លោះប្រាង្គប្រាសាទ សំអាតធ្វើសួនដាំបុប្ផា
រ៉ីសម្រាប់ឲ្យប្រើការ ទីណាសឹងមានច្រើនកន្លែង ។
រ៉ីភ្លើងផ្ទិតប្រើគ្រឿងចក្រ មើលហាក់វិស័យដូចកើតឯង
តាមតែទីងប្រើទីងចាត់ចែង ដំណែងមិនឲ្យខ្វះត្រង់ណា ។
កំផែងខ្វាងទ្វារជាមួយមាំ រៀបចំលំអក្រឧបមា
អ្នកផងមើលទៅមានចេស្តា សំបារសម្បើមក្រៃមហិមា ។
រាជទ្រព្យដំរីដែលសសុខ និងព្រះរាជរថចក្រនានា
ព្រះទីនាំងកប៉ាល់និងនាវា មានជាគ្រប់គ្រាន់គ្នានចន្លោះ ។
ដំណែលពីព្រះបាទនរោត្តម រាជការថែទាំមើលទាំងអស់

កុំឲ្យបាត់ខូចគ្រន់ណាសោះ　គង់នៅរបស់ក្នុងកដា ។

នាទីខាងក្រៅព្រះកដកាំង　ដែលថ្លុកត្រពាំងបឹងនានា

ដាក់ដីបំពេញឲ្យស្មើគ្នា　ធ្វើផ្លាខ្វាត់ខ្វែងបែងក្រឡា ។

ដាក់ក្រួសដាក់ខ្សាច់កំទេចថ្ម　បុកកិនកបល្អហាក់ផ្ទៃក្តារ

បំពោមរៀបគ្រប់សុទ្ធថ្មដា　អ្នកបោសរក្សាកល់វេលា ។

ផ្លូវខ្លះថែមដាក់ម្រក្សណ៍បាកាំង　ឲ្យក្តាំងឲ្យក្តាប់ក្រាបជាប់គ្នា

កុំឲ្យធូលីច្រើនក្នុងផ្លា　ដាក់ធារដោសដិតគ្មានចន្លោះ ។

ផ្លូវខ្វែងទទ្វែព្រែកក៏មាន　សង់ស្ពានបែបថ្មីវិញទាំងអស់

រៀបចំតាមការកុំឲ្យខ្ចោះ　សឹងតែរបស់មានតម្លៃ ។

ធ្វើសុទ្ធតែដែកនោះក៏មាន　ស្ពានខ្លះស៊ីម៉ង់ត៍ដែកសរសៃ

ឲ្យជាប់ឲ្យជួនបួនមាំក្រៃ　កម្រែកម្រមិនធ្វើបាន ។

ស្ពានខ្លះរៀបឥដ្ឋជាប់ទីងថ្ម　ធំល្ហហើយខ្ពស់ពន់ប្រមាណ

ទុកមានកន្លែងជាទីស្ថាន　សម្រាប់សម្រាន្តអស់កាយា ។

បូកសីង់ស៊ីម៉ង់ត៍កំបោរថ្ម　លាយគ្នាជិតល្អក្រប្រេះណា

ក្រាំងក្រាបតាប់ជាប់ហាក់ថ្មដា　យាត្រាកុំមានញរញៀតសោះ ។

ចេតិយវត្តកំពេញប៉ុន្មាន　នាទីស្ថានដីទាំងអស់

សំអាតគ្មានសល់សព្វកៀនកោះ　គន់ទៅស្រួលស្រស់ក្នុងចិន្តា ។

ដំណាំដាំដើមព្រឹក្សាសាយ　　នាទម្ងប់សប្បាយតាំងផ្លែផ្កា
ចិញ្ចឹមម្រឹគនិងបក្សា　　នៅក្នុងសួនច្បារសព្វសារពើ ។
ទន្លេក្នុងក្រុងចតុមុខ　　រាជការទំនុកទើបទឹងធ្វើ
រៀបថ្មមាត់ប្រាំងតាំងពីលើ　　កាប់ឈើរើរៀបទៀបដលសា ។
បញ្ជាពីព្រះបាទនរោត្តម　　សាងទុកនៅចំជ្រោយចង្វារ
គ្រាន់ទឹងឡើងមើលអស់កិច្ចការ　　នោះក៏រាជការថែប្រក្រតី ។
រៀបផ្ទះនាហ្មឺនផ្ទះអ្នកផ្សារ　　ផ្ទះអ្នកធម្មតាទំលប្រក្រី
សំអាតពុំឲ្យមានអប្រិយ　　ចម្រើនសិរីក្តីសុខា ។
ពួកឈ្មួញកប្បាសឈ្មួញនាវ　　ទៅមកនៅជានិច្ចធម្មតា
លក់ដូរទំនិញដាក់ពនផ្សារ　　សព្វគ្រប់ប្រការពេលវេលា ។
ផ្សារនៅលើគោកក៏សន្ទឹក　　ផ្សារទូកមាត់ទឹកទីនានា
ខ្លះរែកទូលលក់តាមផ្លូវផ្លា　　មានជាដរាបតែសព្វថ្ងៃ ។
មនុស្សឈឺគ្រូពេទ្យមើលរក្សា　　ពុំឲ្យពិការយូរកុំរ៉ៃ
ទោះបីបើដល់ជីវិតក្ស័យ　　កែខែឲ្យស្រួលញាតិសន្តារ ។
មើលនោះទៀតពុំយកថ្លៃ　　ពុំយកកម្រៃទុសថា
ដាច់ខាតប៉ុន្មានប្រាក់រាជការ　　មេត្តាជាទានដោយអាល័យ ។
សេនាពាហនមានគ្រប់ផែន　　សុខសឹងវ័យខ្ញែនចេះគុនស្រ័យ

បេះបាញ់ឲ្យស្លាប់កាប់ឲ្យក្ស័យ    បេះភ័យបដ្ឋនគ្រាន់សួរការណ៍ ។
ចាំស្ទាត់ប្រាកដក្បួនសង្គ្រាម    ចាំមិនងើមងាមកិច្ចសោះសារ
ចាំរបបរៀបរយដោយក្រិត្យា    ចាំចាំងសាស្ត្រាវុធនានា ។
ធ្លាប់មានជ័យខ្ញុំមកច្រើនដង    ពុំក្រែងប្រឡូងល្បែងឫទ្ធា
ពុំថប់ពុំធុញពុំញញោក    ពុំជាទុរន់ពុំទន់ទោរ ។
នរណាឃើញហើយខ្ញុំគួរខ្លាច    នរណាកោងកាចអាចពាលោ
នរណាពាក្យធ្វើពេកនោ    នរណាមារមោហទុក្ខ ។
ឲ្យចាំក្រវែលគ្រប់កន្ទួង    ការក្រែងសត្រូវមកឥឡូវ
សក្តិមហាជនក្នុងមេមា    នោះទឹងប្រហារក្ស័យជន្មា ។
នគរបានសុខបានសប្បាយ    បានជនចាំងឡាយមូលគ្គីគា
បានអស់សត្រូវពុំព្រោះពោរ    បានជាពុំខ្វល់ផល់ប៉ី ។
ផកបផល់ពុំខ្វះសកក្រគ្រាន់    ពីរពាន់បួនរយហុកសិបប្រាំបី
ឆ្នាំជូវសប្តស័កព្រះទី    ថ្ងៃពេញបូណ៌មីវិសាខា ។
ស្តេចបានពិនិត្យមើលគ្រាសបត្តិ    ដែលលោកកុង្ស័យអគ្គសេនា
ជំនុំនឹងលោកអ្នកការគារ    ដែលជួយរក្សាគពផែនដី ។
យល់ថាប្រទេសគេទាំងឡាយ    កិច្ចកលឧបាយគួរគប្បី
ពុំសូវទៅខ្លាំងចាំងប្រុសស្រី    ព្រោះគេឃាតឃ្នីរៀនរក្សា ។

តាំងពីអាយុប្អូនប្រាំឆ្នាំ ស្តេចលោកចំណាំឲ្យសិក្សា
មានគ្រូបង្ហាញមានសាលា ឲ្យរៀនអក្ខរាសារសេចក្តី ។
រៀនលេខនព្វន្តគន់គុណហារ រៀនមើលសាស្ត្រាអត្ថបាលី
រៀនក្បួនរៀនច្បាប់សព្វសំដី ទាំងប្រុសទាំងស្រីច្រើនគ្រៀបគ្រា ។
ប្រុសរៀនចម្បាំងរាំងវៃ កុំឲ្យកើតភ័យក្រៅតម្រា
រៀនខាងតម្រិះគ្រប់ប្រការ ថតរូបគូរបារឲ្យគប្បី ។
ជាងដែកជាងឈើធ្លាក់ច្រើនយ៉ាង ជាងទងសំអាងជ្រលក់ក្តី
ជាងស្មិតសិតផ្សារការចាស់ថ្មី ជាងដីបាយអរចរសិលា ។
រៀនដេករៀនដេរកុំសំកុក រៀនស៊ុរៀនចុករៀនចរចារ
រៀនដោះរៀនស្រាយអត្ថប្រស្នា ឲ្យធ្លាតប្រាជ្ញាយល់សព្វសាយ ។
រៀនអស់កិច្ចកល់ក្នុងនាក់ ប្តីជារថចក្រយន្តហោះឆ្ងាយ
ឲ្យរៀនផែនទីកលកិប្រាយ ការក្រែងអន្តរាយចង់អសារ ។
ធ្វើអ្វីឲ្យស្អាតឲ្យចំណាប់ ឲ្យល្អឲ្យធាប់ឲ្យថ្លៃថ្លា
បើខាងតម្រិះតុលាការ ឲ្យមានមេត្តាគ្រាប្រណី ។
ឲ្យដឹងធ្ងន់ស្រាលក្តៅត្រជាក់ ឲ្យដឹងធុរៈរឿងអ្នកក្តី
ពិនិត្យដោយសត្យកាត់ពិន័យ រំពៃថ្លឹងទោសតាមមាត្រា ។

គេថាទើបថ្កើនឡើងសក្តិយស　ថ្កើនកេរ្តិ៍ថ្កើនឈ្មោះព្រោះសត្យា
ថ្កើនពូជពង្សក្នុងលោកា　ថ្កើនតាំងប្រាជ្ញាថាស្មារតី　ៗ
បៀតត្បៀតប្រាក់ខែកាន់តែកើន　កុំបាច់ក្រវើនទៅធ្វើអ្វី
ឲ្យមានឧតិន្នាជាអប្រិយ　កើតក្តីដំនៀលដល់អាត្មា　ៗ
រៀនខាងយកពន្លឲ្យគប្បី　កុំស្តីយកលើសពីអាជ្ញា
កុំលួចកុំលាក់ប្រាក់កជការ　ទើបឡើងសក្តាថ្កាសិរី　ៗ
តែលួចប្រៀបដូចជាដែកដុំ　ពោះបីតូចធំធ្លាក់កប់ដី
ធ្លាក់ក្នុងដីលជីទីអប្រិយ　ឥតបីដែកណាអណ្តែតបាន　ៗ
ពុកផុយរលេះនឹងច្រេះចាប់　អន្តរាយធាប់ៗខូចមិនខាន —
អស់ទៅពុំសូវនៅប៉ុន្មាន　ឥតគេកប់អានយកធ្វើអ្វី　ៗ
រៀនខាងចំណេះអ្នកជំនួញ　ដែលជួញលក់ដូរជាប្រក្រតី
ឲ្យមានគំនិតគិតប្រណី　ទើបគេមេត្រីច្រើនកាសា　ៗ
ទិញមកតាមថោកលក់តាមថ្លៃ　ដែលយកកម្រៃឲ្យគួរការ
ថ្លឹងវល់ឲ្យគ្រប់កុំមុសា　ទើបគេស្នេហាតវែងឆ្ងាយ　ៗ
រៀនខាងពេទ្យហ្នមើលជម្ងឺ　អ្នកឈឺដាក់ថ្នាំឲ្យរសាយ
ឲ្យស្រះឲ្យជាឲ្យសប្បាយ　ឲ្យខ្វល់ឲ្យខ្វាយថែរក្សា　ៗ

ស្រីរៀនតម្រិះខាងនារី　　រៀនត្បាញប៉ាក់ក្បិនក្រឡា
ជ្រលក់ផ្លាស់ពណ៌ល្បើកលើកផ្កា　　ដេរដុលវត្ថាការទាំងឡាយ ។
រៀនធ្វើម្ហូបនូវចំណី　　បែបចាស់បែបថ្មីពីសុបាយ
ធ្វើនំច្រើនយ៉ាងឡែបខាយ　　ប្រិតប្រាយថ្លៃកាឯកអាហារ ។
រៀនខាងទុកដាក់រៀបតាក់តែង　　នាទីកន្ទុងអគ្គអាត្មា
និងទ្រព្យរបស់គ្រប់ប្រការ　　ឲ្យថែរក្សាខំឃ្មាតខ្មី ។
ឲ្យគង់ឲ្យស្អាតកុំឲ្យហ្មង　　ដុសខាងទ្រព្យផងទោះចាស់ថ្មី
តែធ្វេសប្រហែសភ្លេចស្មារតី　　ទ្រព្យអ្វីនឹងខូចខាតអសារ ។
ដល់រៀនចំណាំចាំចេះជាត　　ចូលដេញប្រយោគល្បងប្រាជ្ញា
បានសញ្ញាប័ត្រមកកាលណា　　ទើបចេញធ្វើការទាំងប្រុសស្រី ។
ផលដែលបានរៀនហើយចេះដឹង　　នាំមានដំណឹងច្រើនឃ្មាតខ្មី
នាំឲ្យបានជឿនគឿនស្មារតី　　ធ្វើអ្វីចម្រើនកើនអាត្មា ។
បានទ្រព្យរបស់អស់ស្ថាន　　អ្នកផងកប់អានមានមេត្តា
ឲ្យផលប្រយោជន៍ដូចប្រាថ្នា　　ជាទីសង្ក្រារគតសង្ស័យ ។
បានជាប្រទេសគេច្រើនថ្កើង　　គេចេះតែឡើងមានកម្រៃ
របស់អ្វីយ៉ាងនេះជាកលក់បានថ្លៃ　　ព្រោះមានបច្ច័យដូច្នេះណា ។
ហេតុនេះពងកៈរប្រាកង់សែស　　កុំមានប្រហែលធ្វេសកិច្ចការ

មានចិត្តអាណិតគិតមេត្តា    អស់អ្នកទៃមកយើងនេះខ្ញុំ ៗ
មានពូជជាមនុស្សអ្នកចេះដឹង    ដំណើរដំណឹងរឿងអ្វី ៗ
ទោះរឿងបរលោករឿងលោកិយ    អតីតជាតិមកក្តីណា ៗ
ព្រោះ មានក្បួនច្បាប់ស័ព្ទសម្តី    សាស្ត្រាបាលីគ្រូអាចារ្យ
ជាតិជាកូនប្រាជ្ញអាចឧស្សាហ៍    ត្រិះរិះកិច្ចការគ្រប់ដំណែន ៗ
ចេះសាងប្រាសាទសុទ្ធសាច់ថ្ម    ខ្ពស់ខ្ពង់ទ្រង់ល្អធំចំណែន
ថ្កល់ក្នុងនគរប្រទេសខ្មែរ    ឆ្លាក់ប្លែងក្បួរក្បាច់សាច់សិលា ៗ
ក្បាច់ទិព្វក្បាច់ទេសក្បាច់ក្រវិល    ក្បាច់សត្តនិករក្បាច់ទេព្តា
ក្បាច់ជារូបមនុស្សរូបយក្ស —— ស្រពាប់បុប្ផាល្បក់លក់លាយ ៗ
ជើងទៀនក្រឡឹងយ៉ាងថ្ងាសារ —— ជើងកោសខ្នក់ខ្ចិចពេជ្ររិចជាយ
ជុំវិញកំពែងតែងបន្ទាយ    រៀងករបៀបរៀបសមសួន ៗ
ឆ្លាក់ថ្មមិនហាក់អ្នកឆ្លាក់ថ្ម    ឆ្លាក់ល្អវិស័យឆ្លាក់ក្រមួន
ឆ្លាក់នោះស្អាតណាស់ពេញសមសួន    មុខគួរថែជួយរៀនក្បា ៗ
ជីកជាកសិណាវែងលលេ    ប្រឡាខ្នររបៀបរៀបរចនា
ថ្កល់ស្ពានទ្នះច្នែងទឹករង់ថ្លា    បក្សីមច្ឆាគ្មានខ្វះអ្វី ៗ
នាមនគរវត្តប្រាកដជាក់    ជាទីសំណាក់ពឹងបារមី
តម្កល់ក្បួនច្បាប់ស័ព្ទសម្តី    គម្ពីរបាលីគ្រប់ប្រការ ៗ

ហើយទីនព្រះកែវសឹងមកិត កំណត់មានតាំងទីសាលា
សម្រាប់ទុកឲ្យអស់កុមារ រៀនគ្រប់ប្រការជាប្រក្រតី ។
រាជវាំងស្ដេចគង់ទ្រង់ស្អាងស្អាត ប្រាសាទសឹងច្រើនល្អណាស់ខ្ទី
ជាទីប្រជុំមុខមន្ត្រី កវីបណ្ឌិតព្រឹទ្ធាចារ្យ ។
ព្រះនាមឈ្មោះហៅនគរធំ ទីព្រំកំផែងកែងតាមការ
មួនមាំយ៉ាងឯកប្លែកនេត្រា គ្មានផ្ទួនត្រង់ណាសារសោភី ។
ប្រាសាទប្រាំមួយល្អសន្ធោ តម្កល់ព្រះគោសិរិទ្ធី
ទីនក្បូនតម្រាច្រើនគម្ពីរ ទិក្យនៅនាទីលើប្រាង្គប្រា ។
ផ្ទាក់រូបគោថ្មល្អយ៉ាងឯក ដំណែងប្លែកៗជាបរិការ
ដាក់ខាងប្រាសាទរតន៍វេខា មុខគួរស្នេហាពន់ពេកក្រៃ ។
ធ្វើដេកធ្វើដើរធ្វើរកស៊ី ធ្វើគៀនកាល់ញីដោយព្រៃផ្សៃ
ធ្វើហាក់ចោលរត់សុទ្ធវិស័យ ធ្វើពីសម័យកាលនោះណា ។
ប្រាសាទមួយនោះខ្ពស់សោតសល់ សម្រាប់តម្កល់ព្រះខន្ធថ្វា
រាជទ្រព្យប្រាំយ៉ាងនេះសោតណា មង្គលថ្លៃថ្លាលើសអ្វីៗ ។
តាំងតែពីព្រះកេតុមាលា ស្ដេចសោយរាជ្យជាម្ចាស់ផែនដី
គង់ប្រាសាទថ្មុរពីថ្មី ឥតបើនរណាមកស្មើបាន ។
បើស្ដេចអផ្សុកក្នុងព្រះទ័យ ចង់ប្រពាតព្រៃនៃដែនដាន

នោះមានឧទ្យានក្រៅរាជស្ថាន　　សម្រាប់ស្ដេចថ្កានក្សាន្តចិន្តា ៗ
ដីកជាបារាយណ៍មួយធំក្រៃ　　ផលស័យលន្ទាមហើយផ្កា
ចិញ្ចឹមមច្ឆានូវមច្ឆា　　បក្សីបក្សាច្រើនគណនា ៗ
ទុកគោកជាកោះនៅកណ្ដាល　　គ្រាន់ស្ដេចក្រសាលធ្វើងនាវ
លើកោះមានស្រះមានគង្គា　　មានជាថ្នល់ស្ពានក្នុងស្រះស្រង់ ៗ
កំផែងខឿងទ្វារសុទ្ធថ្មជា　　វេទនាក្បាច់ក្បូរល្អបញ្ចង
ធ្វើពន្លមាត់ស្រះក្រាស់ត្រឹមត្រង់　　សម្រាប់ព្រះអង្គទតមច្ឆា ៗ
មាត់ច្រាំងបារាយណ៍នោះលើកថ្នល់　　ខ្ពស់សល់ដាំអស់ដើមព្រឹក្សា
សឹងតែមានផលមានបុប្ផា　　រសជាតិពិសាគួរអាស្រ័យ ៗ
ចិញ្ចឹមអម្រឹតផងសោភី　　និត្យនៅនាទីនោះច្រើនក្រៃ
អ្នកផងគុំហានពាប់អាស្រ័យ　　សម្រាប់ក្សត្រិយថ្ងៃទតកំសាន្ត ៗ
ស្ទួយសារអាករបរិបូណ៌ណាស់　　គ្មានទ័លគ្មានខ្វះគ្មានខាន
គ្មានកិតគ្មានភ័យស៊ូប្រមាណ　　ក្សេមក្សាន្តអនេកឯកពជា ៗ
ពួកខ្ញុំពដការកំសប្បាយ　　សម្បូណ៌ដូចាយគ្រប់មុខងារ
ពោះកស្ត្រទាំងពួងផងនានា　　សុខសាន្តពល់គ្នាទាំងប្រុសស្រី ៗ
ដោយបុណ្យក្សត្រទ្រង់ទសពិធ　　តាំងពីអតីតដល់លោកិយ
មានព្រះប្រាជ្ញាការផែនដី　　សត្រូវអប្រិយបៀសបេញឆ្ងាយ ៗ

បានជាមហាជនក្នុងនគរ ពុំកើតវិវរភ័យអន្តរាយ
រកស៊ីរកចុកសុខសប្បាយ ពុំសូវក្រហាយក្នុងចិន្តា ។
មួយទៀតព្រំនគរបូរី ទូលាយផែនដីធំក្តាក់ណា
អ្នកផងធ្វើស្រែធ្វើចំការ បានផលាហារគ្មានខ្វះអ្វី ។
នទីផែនទឹកច្រើនកន្លង ស្ទឹងព្រែកអូរខ្វែងក្នុងដែនដី
នឹងថ្លុកត្រពាំងបឹងផងខ្មី ទន្លេមានត្រីច្រើនគណនា ។
ទន្លេសាបមួយធំចំហុត វិស័យសមុទ្រសាគរ
មានអស់មច្ឆាក្នុងគង្គា ច្រើនក្រៃមហិមាជាប្រក្រតី ។
អណ្តើកកន្ធាយត្រីសផង ក្រពើខ្យងអន្ទង់ក្តី
បង្កងកំពឹសក្រោនអ្វី នៅលាយនឹងត្រីគ្រប់ប្រការ ។
ក្តាមខ្យងនឹងខ្ចៅចំពុះទា លៀសគ្រុំនានាជាធម្មតា
ពហូជាតិសត្វក្នុងជលសា ទីណាសឹងមានៈច្រើនណាស់ខ្មី ។
ច្រើនក្រៃលែងច្រើនពន់ប្រមាណ ច្រើនរាប់ពុំបានជានាមអ្វី
បើស្មានគិតរាល់ទឹកនឹងត្រី ត្រីមួយទឹកបីប្រហែលខ្វះ ។
ហើយមានកន្លែងវាលស្រែផែ ឈើរលុបន្ទេច្រើនក្រៃក្រាស់
សត្វហើរពងកូនក៏ច្រើនណាស់ ពុំឈ្នះនឹងប្រៀបធៀបសេចក្តី ។
មិនតែទន្លេសាបមួយទេ បឹងស្ទឹងទន្លេក្នុងផែនដី

ធំតូចនោះច្រើនសឹងមានត្រី　　និងសត្វបក្សីព្រៃព្រឹក្សា ៗ
ប្រហែលទន្លេសាបនោះដែរ　　មានមកតាំងតែយូរវស្សា
ជាកេរ្តិ៍ដំណែលអ្នកខេមរ　　ព្យាបាលដកបៀនមកថ្មី ៗ
បើទៅទេសាចសត្វសន្ទឹក　　លើដីក្នុងទឹកទីណាក្តី
មច្ឆាអម្រឹតនិងបក្សី　　ធាប់បានមកខ្ញុំធ្វើភោក្តា ៗ
សត្វច្រើនក្រៃលែងពន់ប្រមាណ　　ច្រើនឈើស្មសាន្តច្រើនលតា
ច្រើនតាំងជ្រលងទីបព្វតា　　ច្រើននោះហៅមហាច្រើនក្រាស់ក្រៃ ៗ
ទីប្រាកដទីមាសត្បូងយ៉ាងល្អ　　ទីស្ពាន់សំណថ្មបរៃណ
ថ្មកែវត្រួសដែកក្នុងព្រៃផ្សៃ　　យ៉ាងរថាកយ៉ាងថ្លៃច្រើនប្រការ ៗ
អ្នកផងឯបង់បានដើរទៅរក　　បេះតែមានមកជួបប្រាជ្ញា
លក់ជាសម្រស់របស់អាត្មា　　ឲ្យតែឧស្សាហ៍គ្មានខ្វះអ្វី ៗ
អ្នកមានតម្រិះមានប្រាជ្ញា　　អ្នកជាងធ្វើការសារពើក្តី
អ្នកមានជំនួញក្នុងដែនដី　　ច្រើនណាស់ឥតបីខឹងគណនា ៗ
បម្រើនទ្រព្យធនពន់ប្រមាណ　　ពុំសូវរំខានកល់គ្គា
បើក្រគ្រាន់តែតិចទ្រព្យ　　មិនជាអត់ឃ្លានគ្មានភោក្តា ៗ
គង់មានស៊ីបាយពាយស្លៀកពាក់　　ពុំសូវតែត្រាក់អន្ទះសា

ព្រោះស្រុកសុខសាន្តបានធ្វើការ ទៅតែត្រង់ណាបានដូចចង់ ។
អំណើះកល្បក្រោយគ្រោះវដ្ឋា កើតមនុស្សមោហាច្រើនកន្ទួង
ក្នុងដែនក្រៅដែនប៉ះគិតកង សង្កត់អ្នកផងយកទ្រព្យា ។
អស់ខ្ញុំរាជការទាំងមហាក្សត្រិយ៍ ឲ្យលើកទ័ពស្កាត់ច្បាំងកំងក
តប្តិដិបះពុំឈ្នះរ៉ា ចូលលុកក្នុងនាទីក្រុងក្រៃ ។
ទាំងស្ដេចនាម៉ឺនរាស្ត្រជិតឆ្ងាយ ភ័យរត់ខ្ចាត់ខ្ចាយទៅព្រៃផ្សៃ
រីព្រះរាជទ្រព្យទោះថោកថ្លៃ បានដៃសត្រូវទៅអសារ ។
យកទាំងគម្ពីរអត្ថបាលី ក្បួនច្បាប់ក្ដី ៗ ច្រើនប្រការ
ព្រះគោព្រះកែវស្ដុកវដ្ឋា យកព្រះរូបាចេញពាកស្ថាន ។
ទាំងស្ដេចនាម៉ឺនរាស្ត្រប្រជា ច្បាំងយកទ្រព្យាវិញពុំបាន
កន្ទួងច្រើនកល្បពន់ប្រមាណ ខាតខានរៀនសូត្រមកយូរក្រៃ ។
បានជាខេមរអ្នកតម្រិះ ដែលនៅដឹងចេះខ្វះសព្វថ្ងៃ
ចេះគ្រាន់តែរកមកអាស្រ័យ ពុំសូវថ្លាថ្លៃដូចបូរាណ ។
បើទុកជាមានក៏មានតិច បើចេះការកិច្ចមិនប្រមាណ
បើទុកជារៀនពុំសូវបាន ព្រោះពុំសុខសាន្តក្នុងភពការ ។
តាំងពីរាជការបាក់ផងសេស ពុំធ្វេសប្រហែសជួយកំដក

អស់តាំងសត្រូវផងនានា ពុំហ៊ានពុះពារមកផ្ចា ៗ
មិនទ្រឹមតែជួយការប្ដី និងរៀបទឹកដីប៉ុណ្ណោះណា
គិតតាំងជួយសាងសង់សាលា ជ្រើសគ្រូអាចារ្យចេះអធិប្បាយ ៗ
ឲ្យតាំងបង្រៀនអស់កុមារ ឲ្យចេះកិច្ចការរាល់រៀងកាយ
ក្នុងក្រុងក្រៅក្រុងផងតាំងឆ្ងាយ ឲ្យដឹងសព្វសាយក្នុងសេមា ៗ
ព្រះបាទស៊ីសុវត្ថិខត្តិយាវង្ស ស្ដេចទ្រង់ជ្រាបសព្វគ្រប់ប្រការ
ព្រះទ័យត្រេកអរសោមនស្សា ព្រមតាមរាជការថ្វាយសេចក្ដី ៗ
ទ្រង់ឲ្យាយព្រះរាជឲ្យតាក់តែង ឲ្យធ្វើដំណែងសាលាថ្មី
ឲ្យច្រើនថែបយ៉ាងក្នុងបូរី ឲ្យគួរមេត្រីចូលសិក្សា ៗ
ដែលធ្វើបានរួចខ្វះទៅមែន គ្រប់ដែនដីក្រុងស្រែចំការ
ទើបបានតែឲ្យរៀនអក្ខរ និងលេខសាស្ត្រាអត្ថបាលី ៗ
ឥឡូវអេគ្នយ៍ព្រះរាជវាំង ទើបតាំងសាងសង់សាលាថ្មី
ជាទីកន្លែងតែងធ្វើអ្វី ល្អះល្អឥតបីបើឧបមេយ្យ ៗ
មណ្ឌលទ្រនគ្គទ្រង់សង្ហា ឈ្មោះថាព្រះរាជបណ្ណាល័យ
តម្កល់ក្បួនច្បាប់សព្វសាសន៍សៃយ៍ មានរឿងច្រើនក្រៃក្នុងនោះណា ៗ
រឿងពីអតីតមកក៏មាន និងពានបច្ចុប្បន្ននេះក៏ជា

អនាគតកាលក៏ចរចា សម្រាយសាស្ត្រាអត្ថបាលី ។
មួយទៀតទ្រង់សក្តិហាក់មហាកាល ឈ្មោះវេជ្ជបាលនោះគប្បី
មានច្បាប់សម្រាប់គន្ធផែនដី រៀនធ្វើមន្ត្រីតុលាការ ។
ឧត្តរកដកាំងសាលធំសល់ តម្កល់ក្បាច់ថ្មពីបូកណ៍
សន្មតនាមឈ្មោះហៅសាលា សារមន្ទីរវិសេសក្រៃ ។
តាំងគ្រឿងមាសប្រាក់សិរិទ្ធិ ប្រដាប់មុនីកើនចរណៃ
នូវអស់ព័ស្ត្រផ្ការវៃ ទ្រព្យមានតម្លៃគួរស្នេហា ។
បស្តឹមជិតគ្នានោះប្រាកដ កំណត់ហៅសាលារចនា
មានគ្រូបង្ហាញរៀនធ្វើការ ឲ្យបែកប្រាជ្ញទាំងប្រុសស្រី ។
ប្រុសរៀនតម្រិះខាងការប្រុស ឲ្យដឹងសាយសុសបែបបេះថ្មី
ជាងទងជាងស្មិតសិតអ៊ុំ គួរក្តីធ្លាក់ក្តីច្រើនប្រការ ។
ក្រឡឹងប្រដាប់យ៉ាងប្លែកៗ ជាងផែកស្មូនរូបជាប់យ៉ាងណា
មានព្រមតាមចិត្តប៉ងប្រាថ្នា ឲ្យតែឧស្សាហ៍រៀនចុះខ្មី ។
បើស្រីរៀនខាងការនារី រៀនត្បាញប៉ាក់ក្រងដេរផុលក្តី
មានទីដោយខ្លួនខាងស្រីៗ ប្រណីរៀបឲ្យដោយគួរការ ។
ធ្វើសាលនោះទីងសុំម៉ង់តល្អ ទីងឥដ្ឋទីងថ្មទីងផែកជា

ក្រួសខ្សាច់និងឈើយ៉ាងខ្ទឹមសារ តាមជាងវេចនាហត្ថា ៗ
ក្បាច់ក្បូរកំពូលហាក់ប្រាសាទ ស្អាតក្រៃលែងស្អាតគ្មានសល់អ្វី
មួនមាំចម្លែកឯកដែនដី គប្បីតាំងអស់ស្រស់ថ្លៃថ្លា ៗ
ខាងមុខកម្រាលក្រាលឥដ្ឋពណ៌ លំអរមានជរមានក្រឡា
ផ្កាយធ្លាក់ប្រពាក់ទង់ក្ដា ពាសពេញសាលាគ្មានចន្លោះ ៗ
របៀបរៀបរយដោយកន្ទង ចំនួនដំណែងល្អតាំងអស់
ពុំមានអាក្រក់បន្តិចសោះ សុទ្ធសឹងរបស់ក្នុងរាជការ ៗ
ទូតូចទូធំដាក់សៀវភៅ ក្បួនច្បាប់និត្យនៅទីនោះណា
ប្រដាប់សរសេរនិងធ្វើការ មានជាធម្មតាគ្មានខ្វះអ្វី ៗ
ហើយមានតាំងតុតាំងជើងម៉ា តម្រៀបត្រៀបត្រាគ្រែកៅអី
សម្រាប់ទុកប្រើជាប្រក្រតី ពុំឲ្យអប្រិយក្តីសៅហ្មង ៗ
នាទីជិតខាងរោងសាលា សង់សួនបុប្ផាជុំវិញផង
ក្លាយក្លិនពិដោរមកម្ដង ៗ មុខគួរស្នេហ៍ស្នងចង់ចិន្ដា ៗ
ហើយឲ្យមានអ្នកនៅថែទាំ បោសជូតរៀបចំគ្រប់សាលា
រីឯលោកគ្រូលោកអាចារ្យ នៅប្រចាំការប្រៀនសព្វថ្ងៃ ៗ
ល្អនោះហៅល្អក្រមានយ៉ាង រាជការស្អិតស្អាតល្អពេកក្រៃ

ល្អស្រស់របស់មានតម្លៃ　ល្អស្រួលអាស្រ័យទីនោះណា ។
ទុកឲ្យសមណៈនិងមហាជន　ទុកដូចឲ្យធនយសស័ក្តា
ទុកទីកជានុវង្ស　ទុកឲ្យសេវកាមាត្យមន្ត្រី ។
នៅសល់កុមារផងទាំងឡាយ　កល់រូបកាយទោះប្រុសស្រី
កំឡុងក្នុងនាទីបូរី　ដែនដីនគរកម្ពុជា ។
ដែលពុំទាន់ដឹងរឿងគង់ការ　និងអក្ខអក្ខរាលេខនានា
បើចង់រៀនសូត្រកល់គ្នា　រាជការអាជារជាប្រក្រតី ។
ហេតុនេះគួរតែចង់ចេះដឹង　គួរប្រឹងសង្វាតខំឃ្មាតខ្មី
គួរចូលទៅរៀនទើបគប្បី　គួរអើរៀនទៅតាមត្រូវការ ។
នឹងបានភ្លឺដឹងសព្វសេចក្តី　ភ្លឺដូចរស្មីកែវមុខតា
ភ្លឺច្បាស់ប្រាកដនឹងនេត្រា　ភ្លឺថ្លាដួងចិត្តឥតសង្ស័យ ។
តែឃើញរឿងច្រើនកើនតម្រិះ　តែចេះការច្រើនជាបច្ច័យ
តែចូលរៀនសូត្រកល់ខែថ្ងៃ　ដូចនៃត្បូងពេជ្រលេចរស្មី ។
នឹងបានសម្បត្តិសម្បូណ៌យស　នឹងមានកេរ្តិ៍ឈ្មោះខ្ពស់ឮល្បី
នឹងមានប្រាជ្ញាពីលោកិយ　នឹងមានសិរីសួស្តីប្រាណ ។
និទានដូចមានខាងលើនេះ　បើពុំរៀនរិះតាមលំនាន

ទោះខំរកស៊ីពុំសូវបាន | រំខានទីទល់ខ្វល់ក្នុងកាយ ។
បានដៃប៉ុន្តែរកបានតិច | ព្រោះធ្វេសរៀនកិច្ចការសព្វសាយ
មិនស្មើនឹងអ្នកនេះឧបាយ | ពុំសូវធូរចាយដូចគេឡើយ ។
អ្នកយសឥតស័ក្តិឥតលក្ខណា | ឥតអស់ប្រាជ្ញាសូន្យសោះហើយ
ឥតស្រាកលំបាកពុំមានស្បើយ | ឥតល្ហើយជាទុក្ខគ្រប់ប្រការ ។
មួយគួរគិតគុណព្រះរតនត្រៃ | ពីគុណក្សត្រថ្លៃទ្រង់ករុណា
បីគុណអស់លោកអ្នកជការ | បួនគ្រូអាចារ្យអន្តអធិប្បាយ ។
បំណាច់ដែលលោកមានសប្បុរស | សាងទុករបស់ច្បាប់បរិយាយ
ឲ្យយើងរៀនដឹងតវែងឆ្ងាយ | រក្សារូបកាយគ្រប់អាត្មា ។
គុណនោះវិសេសប្រសើរក្រៃ | តម្លៃគ្មានអ្វីប្រៀបឧបមា
រីគុណបិតានិងមាតា | មានច្រើនប្រការដោយសោះហ៊ាន ។
និងសព្វគុណផងនានា | ដែលជាចម្រើនយើងក្សេមក្សាន្ត
ក៏ត្រូវរំលឹកនឹកកុំខាន | កប់អានស្មោះស្ម័គ្ររួមរក្សា ។
ភាវនាព្រះធម៌ប្រុងវិញ្ញាណ | សាងសីលសាងទានមានមេត្តា
កុំសាងទុច្ចរិតចិត្តមោហា | ក្លៀវក្លាបៀតបៀនគេអន្តរាយ ។
កុំមានសេចក្តីបង់ប្រមាទ | កុំធ្លាក់ទៅកាន់ភូមិអបាយ
ឲ្យដើរតាមផ្លូវត្រូវប្រឡាយ | កុំបីខ្ជើយណាយក្នុងចិន្តា ។
ទើបបានត្រឹមតាមព្រះធម៌ | ជាល្អក្នុងពុទ្ធសាសនា

ទើបបានកុសលសាធុការ　　ទេវតាចម្រើនសុខសប្បាយ ។
　　រឿងនេះខ្ញុំតែងតាមទំនង　　តែងតាមគន្លងកលកិប្រាយ
តែងជូនអស់លោកអ្នកទាំងឡាយ　　តែងតាមតម្រាយពាក្យសត្យា ។
លើកឡាត់កាត់បទឲបៃបខ្លី　　សេចក្ដីគ្រាន់ជាសរអាការ
យកផលានិសង្សផ្ដង់ចេតនា　　ដោយសារសីលទានទិញ្ញានហើយ ។



# ជីវប្រវត្តិ របស់ព្រះគ្រូ ធម្មបរិយាវង្ស អ៊ិត (១)
## ចៅអធិការវត្តដំណាក់ ជាព្រះឧបជ្ឈាយ៍

ព្រះគ្រូធម្មបរិយាវង្ស នាមដើមឈ្មោះ អ៊ិត ជាបុត្រ ចន្ទ លៀប មាតាឈ្មោះ ស្វាយ ស្រុកកំណើត ឃុំពោធិ៍ធំ ខេត្តសៀមរាប កើតនៅថ្ងៃ ៣ ៗ ៨ ឆ្នាំចឆស័ក ពុទ្ធសករាជ ២៣៩៤ ដល់អាយុ ១៣ ឆ្នាំ បានចូលទៅរៀនអក្សរក្នុងសំណាក់លោកគ្រូ កែត ចៅអធិការវត្តដំណាក់ ដល់អាយុ ១៥ ឆ្នាំ បានបួសជាសាមណេរ អាយុ ២១ បានឧបសម្បទជាភិក្ខុ ក្នុងថ្ងៃ ២ ៗ ១ ៨ ឆ្នាំមមែត្រីស័ក ពុទ្ធសករាជ ២៤១៤, ក្នុងពុទ្ធសីមាវត្តដំណាក់ ព្រះមហាករុណាថេរ កែ ជាព្រះឧបជ្ឈាយ៍ ឲ្យនាមឈ្មោះជា សុវណ្ណកេសរ ព្រះគ្រូធម្មបរិយាវង្ស ជាអ្នកមានសេចក្តីព្យាយាម និងការរៀនសូត្រធម្មវិន័យជាងអស់លោកឯទៀត បួសបានតែ៣វស្សា ព្រះមហាករុណាថេរជាឧបជ្ឈាយ៍ អនុញ្ញាតឲ្យធ្វើជាគ្រូសូត្រ វត្តដំណាក់ ដល់វស្សាជាគម្រប់ ១៤ លោកបានចូលទៅរៀនព្រះវិបស្សនាធុរៈ នឹងលោកគ្រូ មាស នៅអធិការវត្តលង្កា បានសម្រេចដូចសេចក្តីប្រាថ្នា ហើយថយមកគង់នៅវត្តដំណាក់វិញ ហើយបានបង្រៀនវិបស្សនាធុរៈ ដល់អស់ភិក្ខុសាមណេរ ឧបាសក ឧបាសិកា តរហូតដល់មកឆ្នាំមមែឆស័កពុទ្ធសករាជ ២៤២៧ លោកគ្រូព្រះមហាករុណាថេរ ទទួលមរណភាពទៅ ព្រះគ្រូធម្មបរិយាវង្ស ធ្វើជាចៅអធិការវត្តដំណាក់

---

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយា ក្បាលលេខ១២ ឆ្នាំ១៩២៦-២៧ ។

ហើយធ្វើជាឧបជ្ឈាយ៍បំបួសកុលបុត្រ ក្នុងវត្តដំណាក់ទេះ ១ វត្តអំពិល ១ វត្តប្រាសាទ ១ និងវត្តខ្នា ១ ។

កាលនៅក្នុងកដការសៀម បានត្រាតាំងជាព្រះគ្រូ សុវណ្ណកោ-សរបវរសត្ថា លុះដល់មកថ្ងៃ ៦ ១៤ ៦ ឆ្នាំមមែទព្វស័ក ត្រូវនឹងថ្ងៃ ១៨ យ៉ាំងវីយេ ឆ្នាំ ១៩០៨ មានឡាយព្រះហស្តលេខាព្រះករុណាជាម្ចាស់ជីវិតព្រះចៅក្រុងកម្ពុជា តាំងឲ្យឡើងងារ ព្រះគ្រូធម្មបរិយាវង្ស មាននិច្ចភត្ត និងត្រៃឆ្នាំ តាមកិត្តិយស ។

ព្រះគ្រូធម្មបរិយាវង្ស យកព្រះហឫទ័យទុកដាក់ក្នុងការទំនុកបម្រុងព្រះពុទ្ធសាសនាជាទីបំផុត របស់លោកដែលបានសាងទុកក្នុងវត្តដំណាក់ គឺគម្ពីរធម៌វិន័យ រួមទាំងគម្ពីរតូច គម្ពីរធំ ៩១ គម្ពីរ ហើយនិងកសាងទីសេនាសនៈក្នុងអាវាមទាំងអស់ មានព្រះវិហារជាដើម ក៏កើតដោយសារគំនិតលោក បុណ្យលោកព្រះគ្រូធម្មបរិយាវង្សទាំងអស់ ចំណែកការកុសលឯទៀតៗ ដែលលោកបានសាងនោះ គឺធ្វើកឋិនទាន ៨ ដង បានសាងត្រៃធម្មាសន ៦ បានសាងទៀនព្រះវស្សា ១៥ ដង បានសាងព្រះពុទ្ធរូបធ្វើបុណ្យអភិសេក ធ្វើពីប្រាក់ខ្លះ មាសខ្លះ ទង់ហ៊ាខ្លះ ៩ ព្រះអង្គ បានធ្វើបាយបូជា វិសាខបូជាគ្រប់ ៤១ ឆ្នាំ មានខានតែម្តង ក្រៅពីនោះមិនដែលខានទានឡើយ ។

ម្យ៉ាងទៀតលោកបានខំបង្ហាត់បង្រៀនសាមណេរ ដែលជាសិស្សានុសិស្សឲ្យចេះដឹងធម្មវិន័យ ឲ្យប្រព្រឹត្តឲ្យបានត្រឹមត្រូវ តាមធម្មវិន័យ

លើកសេចក្តីប្រតិបត្តិឲ្យកាន់តែល្អត្រឹមត្រូវឡើង ដរាបដល់មកឆ្នាំថ្មីសប្ត-ស័កនេះ លោកមានព្រះជន្ម៧៦ឆ្នាំ ប៉ុល្មានសេចក្តីជរា ចាប់អាពាធមិនសប្បាយតាំងពីខែអាសាឍមក លុះដល់មកថ្ងៃ ១៣ ។

ហេតុតែលោកមានព្រះហឫទ័យ អាសូរករុណាដល់ភិក្ខុសាមណេរ ដែលជាសទ្ធិវិហារិកអន្តេវាសិក ដែលនៅជាខាងក្រោយ លោកបានឲ្យនិមន្តលោកគ្រូសូត្រទាំងពីរអង្គ ហើយនឹងលោកអាចារ្យ ទាំង លោកភិក្ខុ ភិម និងអស់លោកឯទៀតៗជាច្រើន ឲ្យទៅប្រជុំស្តាប់ព្រះពុទ្ធដីកាលោកនោះ ប្រោះគ្រាទុកជាសម្គាល់ ដើម្បីជាលក្ខណ៍ចាំនតទៅឲ្យអស់សិស្សានុសិស្សទាំងអស់ប្រព្រឹត្តតាម ដើម្បីនឹងបានចំរើនមគ្គផលកុសលដល់លោកជាគ្រូ ជាអាចារ្យនៃយើង ព្រះពុទ្ធដីកានេះ មានសេចក្តីដូចតទៅ៖

ព្រះពុទ្ធដីកាព្រះគ្រូធម្មបរិយាវង្ស ជាព្រះឧបជ្ឈាយ៍វត្តដំណាក់ ឲ្យជម្រាបដល់លោក ភិក្ខុ សាមណេរ ដែលជាសទ្ធិវិហារិកអន្តេវាសិកទាំងអស់ ដែលនៅក្នុងវត្តនេះក្តី ក្រៅវត្តនេះក្តី ឲ្យទទួលប្រតិបត្តិតាមពាក្យបណ្តាំ ដែលមានខាងក្រោមនេះ

១– ត្រូវចប្អូលគ្នាខំសូត្ររៀនធម៌វិន័យ ឲ្យបានចេះដឹងតាមចំណែកខ្លួន គឺភិក្ខុត្រូវឲ្យចេះដឹងធម៌វិន័យសម្រាប់ភិក្ខុ សាមណេរត្រូវឲ្យចេះដឹងធម៌វិន័យសម្រាប់សាមណេរ ។

២– បើរៀនសូត្រចេះដឹងហើយ ត្រូវប្រព្រឹត្តឲ្យបានត្រឹមត្រូវ តាម

ធម៌វិន័យនោះ កុំឲ្យទៅកាន់ទិដ្ឋិមានះប្រព្រឹត្តខុសពីព្រះពុទ្ធបញ្ញត្តិ ពុទ្ធានុញ្ញាតឡើយ ។

៣– ត្រូវនាំគ្នាឧស្សាហ៍គោរពប្រតិបត្តិ ធ្វើវត្តព្រឹក វត្តល្ងាច ក្នុងព្រះវិហារឲ្យបានរាល់ថ្ងៃកុំឲ្យខាន វៀរមួយតែមានធុរៈឈឺថ្កាត់ ឬមានរវល់ជាធំ ទើបខានបាន ។

៤– ភិក្ខុក្តី សាមណេរក្តី ត្រូវស្រឡាញ់រាប់អានគ្នា ទុកដូចបងប្អូនបង្កើត ហើយគោរពដល់គ្នានិងគ្នា តាមវស្សទី ។

៥– ត្រូវដាស់តឿនគ្នា ឲ្យជំនួយបោសប្រាសសំអាតទីវត្ត ទីព្រះវិហារ និងជួយថែរក្សាដួសផុលកុំឲ្យខាតខូចឡើយ ។

៦– លោកដែលធ្វើជាចៅអធិការក្តី គ្រូសូត្រក្តី ត្រូវជួយដាស់តឿន ត្រួតត្រាឲ្យបានសម្រេច តាមពាក្យបណ្តាំនេះ ឲ្យសព្វគ្រប់ កុំឲ្យសល់ខានឡើយ ។

ចៅអធិការព្រះឧបជ្ឈាយ៍វត្តដំណាក់

ព្រះគ្រូធម្មចរិយាវង្ស

សុំជញ្ជើញឈ្មោះលោកដែលទទួលព្រះពុទ្ធដីកា

១. លោកគ្រូសូត្រ . . . ការុយ

២. លោកគ្រូសូត្រ . . . ឈិត

៣. លោកអាចារ្យ . . . ចាន់

៤. លោកគ្រូសូត្រ . . . ឌឹម

# សេចក្ដីអធិប្បាយអំពីទសជាតក៍ និង បរិមសម្ពោធ៍ (១)

## របស់ លោកអ្នកឧកញ៉ា វាំងវរវៀងជ័យ

ក្រុងភ្នំពេញថ្ងៃ ៧ ១៤ ៤ ឆ្នាំខាលសប្តស័ក ព្រះពុទ្ធសករាជ ២៤៦៨ មហាសករាជ ១៨៤៧ ចុល្លសករាជ ១២៨៧ ១៣ ម៉ារ្ស ១៩២៦

រឿង ទសជាតក៍ និង បរមសម្ពោធិ ក្រុងកម្ពុជាធិបតី មានគំនូរពណ៌

ពីអ្នកឧកញ៉ាវាំងវរវៀងជ័យ ជួន សេនាបតីក្រសួងព្រះបរមរាជវាំង ព្រះយ៉ាំង និង វេទា បានតែងជាភាសាបារាំងសែស ។

យើងមានសេចក្ដីសោមនស្សជាពន្ទឹកដែរ ក្នុងសម័យនេះ អ្នកស្រីក្រមុំ ម៉ាដឹមូអាសែលការប៉ឺឡេស ជាអ្នករក្សាព្រះរាជបណ្ណាល័យ ក្នុងក្រុងភ្នំពេញ បានយកចិត្តទុកដាក់ គិតបង្កើតទស្សនាវដ្ដី ជាសៀវភៅបោះពុម្ពនាមថា "កម្ពុជសុរិយា" ដោយរាជការជំ អនុញ្ញាតសម្រាប់បោះពុម្ព ១ខែម្ដង អស់ទាំងសេចក្ដីដែលមានប្រយោជន៍ក្នុងព្រះពុទ្ធសាសនាដើម្បីនឹងចំរើនបំណេះវិជ្ជាប្រាជ្ញាឲ្យយល់ក្នុងការគោរពប្រតិបត្តិ ព្រះពុទ្ធបញ្ញត្តិឲ្យបានត្រឹមត្រូវ ជាផ្លូវអាចនាំអ្នកទាំងឡាយ ដែលប្រព្រឹត្តបរិសុទ្ធឲ្យបានសម្រេចដល់សេចក្ដីប្រាថ្នាក្នុងនាលោកនេះ និងទៅបរលោកខាងនាយ ។

យើងបានតែងរឿងនោះស្រេច ក្នុងព្រះពុទ្ធសករាជ ២៤៥៨ ឆ្នាំ

---

១— អត្ថបទនេះ ស្រង់ពី កម្ពុជសុរិយា ក្បាលទី១-៣-៨- ឆ្នាំ ១៩២៦-២៧ ។

ថោះ សប្តស័ក ត្រូវនឹងគ្រិស្តសករាជបារាំង ១៩១៥ មកដល់ឥឡូវនេះ ត្រូវ ១១ ឆ្នាំហើយ ។

មានគំនូរពណ៌ ៧៦ សន្លឹក តាំងពីព្រះតេមិយ (ជាតក) រៀងទៅ ដល់ធ្វើបុណ្យថ្វាយព្រះភ្លើងព្រះបរមសព ព្រះសម្មាសម្ពុទ្ធ ដូចមានគំនូរ ក្នុងព្រះឧបោសថព្រះកែវមរកតក្នុងក្រុងស្រាប់ ។ យើងពុំបានតែងជាអក្សរ ខ្មែរ ព្រោះមានក្នុងសាស្ត្រាស្រាប់ហើយ ។

មួយទៀតយើងបានតែងរឿងវចនានុក្រម: (កាមរគ្គ) ជាភាសាបារាំង សែស - ខ្មែរ មានគំនូរពណ៌ ១៩៦ សន្លឹក បានស្រេចពីឆ្នាំ . . . .ស័ក ត្រូវនឹងឆ្នាំបារាំង ១៩១១ សៀវភៅរឿងតាំង ៦ នេះ បានទុកក្នុងព្រះរាជ បណ្ណាល័យឲ្យគិតបោះពុម្ព ។

# ពតិមាន

ក្នុង ចិត្ត របស់យើងដែលប្រាថ្នានឹងញាំងសេចក្តីពួក ព្រះគេជ- ព្រះគុណដល់ព្រះមហានគរក្រុងបារាំងសែស ដែលបានប្រកិតគួរក៏ជួយ ទំនុកបំរុងក្រុងកម្ពុជាធិបតី ឲ្យបានផលប្រយោជន៍ដោយស្មោះសរជាអនេក នេះ យើងសន្សំវេលាដែលទំនេក្រៅពេលធ្វើរាជការ រាជការមុខក្រសួង លើយើងជាច្រើនណាស់ បានរៀបគាក់តែងរឿងនេះ សេចក្តីប្រាថ្នានៃ យើង គ្រាន់តែពន្យល់យ៉ាងខ្លី ឲ្យភ្ញៀវបុគ្គលដំណើរបារាំង ដែលមក មើលក្រុមរឿងរបស់យើងឲ្យស្គាល់រឿងគំនូរ ដែលគូរលើជញ្ជាំងក្នុង ព្រះវិហារវត្តព្រះកែវ គូរតំណាងពង្សាវតារ នៃព្រះពុទ្ធជាម្ចាស់យើង គឺ

ព្រះ សមណ គោតម ឬព្រះ សាក្យមុនី ដែលខេមរជាតិទាំងអស់ក្នុងបច្ចុប្បន្ននេះកាន់ខ្ជាប់ខ្ជួន ។

មុននឹងសម្តែងរឿងព្រះសម្មាសម្ពុទ្ធ ជាកំពូលមហាប្រសើរញុំាងប្រយោជន៍មហាជនកម្ពុជាទាំងឡាយនេះ យើងត្រូវអធិប្បាយកយសេចក្តីខ្លះឲ្យយល់ក្លីសិន ។

សូមតេជៈសាធុការដែលគាក់តែងនេះ ជួយបណ្តាលឲ្យសាធុជនផងទាំងឡាយកាន់ខ្ជាប់ក្នុងការកុសលយកតម្រាប់តាមគ្នាដ៏វិសេសនេះតរៀងទៅៗ

## ព្រះពុទ្ធចរិត

ព្រះពុទ្ធានុញ្ញាតនៃព្រះពុទ្ធអង្គក្នុងព្រះត្រៃលក្ខណ៍ គឺសេចក្តីសុចរិតប្រាកដទាំង ៣ ក្នុងវិបស្សនា គឺកឃើញឧបការនៃមនុស្សលោក ទិងកម្មដ្ឋាន គឺជញ្ជឹងគិតឃើញឧបការជាមូលហេតុ ស្រង់យកមកពីក្នុងព្រះត្រៃបិដក គឺកញ្ជើទាំង៣ដែលតម្កល់ព្រះ ពុទ្ធញាណ នោះមានគោលបារីកសម្តែងដូច្នេះ ៖

អនិច្ចំ ទុក្ខំ អនត្តា

អនិច្ចំ គឺសេចក្តីមិនទៀង គឺវត្ថុអ្វីៗដែលឥតវិញ្ញាណ ឬមានវិញ្ញាណក្តី ក៏តែងតែនឹងផុតបាត់បង់ ។

ទុក្ខំ គឺសេចក្តីទុក្ខរបស់សត្វដែលមានជីវិត គឺអ្វីៗ ដែលមានជីវិតសឹងមានទុក្ខ ។

អនត្តា គឺសេចក្តីសោះសូន្យ ។

ជន្មាយុដែលរស់នៅជាសេចក្ដីទុក្ខ, ទុក្ខនេះកើតមកពីចំណង់ ជាដើម ដែលចង់បានទ្រព្យសម្បត្តិ និងតណ្ហាកាម បានជាព្រះបរមលោកុត្តមាចារ្យ ទ្រង់សំដែងជាគោលចារឹក ត្រូវឲ្យលះបង់អាត្មាឯងកុំឲ្យគិតពីរូបខ្លួន ដើម្បីនឹងឲ្យរួចពីចំណង់នោះ ដែលជាបុព្វហេតុនាំឲ្យកើត និងស្លាប់វិលវល់ទៅមកក្នុងវដ្ដសង្សារ ដែលមានជីវិតនិងសេចក្ដីទុក្ខជៀសមិនរួច ។

អរហត្តផលញ្ញាណ ដែលចេញផុតចាកសេចក្ដីស្រេកឃ្លាន ជ្រះស្រឡះហើយ គេនឹងយកព្រះនិព្វានជាស្ថានបរមសុខ អស្ចារ្យថ្លៃកត់ត មរណៈ ផុតសេចក្ដីស្លាប់និងមិនត្រឡប់កើតវិញនិងឥតមាន ជរាព្យាធិ ទុក្ខឡើយ ជាមហាស្ថានដែលព្រះបរមលោកនាថ ទ្រង់ព្រះប្រាថ្នា និងនាំនូវជនានុជន ឧបាសក ឧបាសិកា ទាំងពួង ដែលកាន់សេចក្ដីសុចរិត បានសាងកុសលត្រឹមត្រូវតាមព្រះពុទ្ធបញ្ញត្តិ លុះផុតជន្មាយុទៅឲ្យបានទៅកាន់ពួងស្ថានព្រះនិព្វានបរមសុខក្នុងជាតិជាទីបង្អស់បំផុតនោះ ។

## គម្ពីរព្រះត្រៃបិដក

ព្រះពុទ្ធសាសនា ដែលជាតិកម្ពុជា ឬខេមរ គឺខ្មែរកាន់រៀងមក ដល់បច្ចុប្បន្ននេះ គឺព្រះពុទ្ធព្រះនាមជាព្រះសមណគោតម ឬព្រះសក្យមុនី ដែលចូលបរិនិព្វាន តាំងពីព្រះពុទ្ធសករាជមួយឆ្នាំរៀងមក ដល់ឆ្នាំថោះសប្តស័ក មហាសករាជ ១៨៣៧ ចុល្លសករាជ ១២៧៧ ត្រូវនិងគ្រិស្តសករាជបារាំង ១៩១៥ ។

ក្នុងរាជ្យព្រះករុណាព្រះបាទសម្ដេចព្រះ ស៊ីសុវត្ថិ ចមចក្រពង្ស

ព្រះចៅក្រុងកម្ពុជាធិបតី ជាម្ចាស់ជីវិតលើត្បូងនិងក្នុងបុណ្យលោក ឡើរ៉េស៊ី-
ដង់ស៊ុប៉េរីយើរហ្វ្រង់ស្វាបូដូកុំង ជាតំណាងប្រតិភូក្រុងបារាំងសែស ក្នុង
ក្រុងកម្ពុជាធិបតី ដែលយើងបានតែងរឿងនេះស្រេចហើយនោះ បាន
ពុទ្ធសករាជ២៤៥៨ឆ្នាំហើយ ។ បើរាប់មកដល់ឆ្នាំខ្ញុំសព្ទស័ក ត្រូវនឹង
ឆ្នាំបារាំង ១៩៦៦ នេះ ត្រូវ ២៥១០ ឆ្នាំជាព្រះពុទ្ធសករាជ ។ ច្បាប់
បន្ទាត់សព្វគ្រប់ ពីព្រះពុទ្ធសាសនាដ៏វិសេស នេះផ្ទុកមានក្នុងព្រះ ត្រៃ
បិដក គឺកញ្ចើទាំង ៣ សម្ដែងព្រះទសពលជា ជាគម្រោងគម្រា ខាន
ប្រាំបីហ្មឺនបួនពាន់ព្រះធម្មក្ខន្ធ ។

## ព្រះត្រៃបិដក

ត្រៃ ប្រែថាបី បិដក ប្រែថា កញ្ចើ បុកាជន៍ "កញ្ចើបុកាជន៍ ៣"
តម្កល់ព្រះវិន័យ ព្រះសូត្រ ព្រះអភិធម្ម ចែកជា១៧គម្ពីរ គឺ
វិន័យបិដក ៥គម្ពីរ សុត្តន្តបិដក ៥ គម្ពីរ អភិធម្មបិដក ៧
គម្ពីរ រួមជា ១៧ គម្ពីរ ។

១) **ព្រះវិន័យបិដក** កញ្ចើបុកាជន៍(ជាទីតម្កល់)នូវព្រះវិន័យ
គឺច្បាប់សម្រាប់ទូន្មានទ្វារកាយនិងវាចាឲ្យរៀបរយបានដល់ទៅបញ្ញត្តិ ដែល
ចាត់ជាសិក្ខាបទ និង អភិសមាចារ គឺប្រព្រឹត្តល្អជាគ្រឿងក្បួនគណៈ
សង្ឃក្នុងព្រះពុទ្ធសាសនា ។

### ព្រះវិន័យបិដកនេះចែកជា ៥ គម្ពីរគឺ :

១. អាទិកម្ម "កំណើតដើម" សម្ដែងពី មូលបញ្ញត្តិ

នៃសិក្ខាបទធំ-តូច មានចំនួន ១៩ សិក្ខាបទ មាន បារាជិក ៤ ជាដើម គម្ពីរនេះមាន ៤២០០ ព្រះធម្មក្ខន្ធ ។

២- បាចិត្តិយ អំពើល្មើសញ៉ាំងកុសលឲ្យធ្លាក់ចុះ សម្តែងពីសិក្ខាបទ មានចំនួន ២០៨ សិក្ខាបទ មាន និស្សគ្គិយ និងអាបត្តិ ៣០ ជាដើម គម្ពីរនេះមាន ៥០០០ ព្រះធម្មក្ខន្ធ ។

៣- មហាវគ្គ (ពួកធំ) សម្តែងពីកម្មរបស់សង្ឃធំៗ មានចំនួន ១០ ខន្ធ មានបព្វជ្ជាខន្ធកៈ គឺរឿងបំបួសជាដើម គម្ពីរនេះមាន ៥០០០ព្រះធម្មក្ខន្ធ ។

៤ ចុល្លវគ្គ (ពួកតូច) ពីកិច្ចានុកិច្ចរបស់សង្ឃតូចៗ ចំនួន ១២ ខន្ធកៈ មានកម្មក្ខន្ធកៈ ជាដើម គម្ពីរនេះមានព្រះធម្មក្ខន្ធ ៣៤០០ ។

៥- បរិវារ (រាយរង) សម្តែងពីសេចក្តីប្រមូលនៃបញ្ញត្តិ បញ្ចូលជាពួក ដើម្បីឲ្យជាក់ច្បាស់ឡើង មានសម្តែងពីមហាវារៈ ១៦ ជាដើម (គម្ពីរនេះមានព្រះធម្មក្ខន្ធ ៣៥០០) ។

រួមព្រះធម្មក្ខន្ធក្នុងព្រះវិន័យបិដកទាំង ៥ គម្ពីរត្រូវជា ២១.០០០ ព្រះធម្មក្ខន្ធ ។

១៤ ព្រះ **សុត្តន្តបិដក** គឺព្រះសូត្រ កញ្ចប់គម្ពីរ ជាទីតម្កល់នូវព្រះសូត្រ សម្រាប់ប្រតិបត្តិរបស់ពុទ្ធបរិស័ទដោយសង្ខេបខ្លះ ពិស្តារខ្លះ ។

ព្រះសុត្តន្តបិដកនេះចែកជា៥គម្ពីរគឺ :

១. ទីឃនិកាយ (ប្រជុំនៃសូត្រវែងៗ) សម្តែងពីព្រះសូត្រ មានសេចក្តីពិស្តារ ចំនួន ៣៤ សូត្រមានព្រហ្មជាលសូត្រជាដើម គម្ពីរនេះមានព្រះធម្មក្ខន្ធ ៣០០០ ។

២. មជ្ឈិមនិកាយ (ប្រជុំនៃសូត្រយ៉ាងកណ្តាល) សម្តែងពីព្រះសូត្រមានសេចក្តីមិនវែងមិនខ្លីយ៉ាងកណ្តាល មានចំនួន ១៥២ សូត្រ មាន មូលបរិយាយសូត្រ ជាដើម គម្ពីរនេះមានព្រះ ធម្មក្ខន្ធ ៣០០០ ។

៣. សំយុត្តនិកាយ (ប្រជុំនៃសូត្រដែលរួបរួម) សម្តែងពីព្រះសូត្រដែលភ្ជាប់ដោយប្រភេទនៃបុគ្គលនិងធម៌មានចំនួន ៧៧៦២ សូត្រ មាន ឱឃតរណសូត្រ ជាដើម គម្ពីរនេះមានព្រះ ធម្មក្ខន្ធ ៤០០០ ។

៤. អង្គុត្តរនិកាយ (ប្រជុំនៃធម៌មានអង្គដ៏ក្រៃលែង) សម្តែងពីធម៌ជាពួក ១ តាំងពីធម៌មានពួក ១ ដរាបដល់ធម៌មានពួក ១១ មាន ចំនួន៩៥៥៧សូត្រ មាន ចិត្តបរិយាទានសូត្រ ជាដើម គម្ពីរនេះ មានព្រះ ធម្មក្ខន្ធ ៥០០០ ។

៥– ខុទ្ទកនិកាយ (ប្រជុំនៃធម៌តូចៗ) សម្តែងរួបរួម ពីប្រភេទធម៌តូចៗ មានចំនួន១៥គម្ពីរ ឈ្មោះ ខុទ្ទកបាឋ និង ធម្មបទ ជាដើម គម្ពីរនេះមាន ធម្មក្ខន្ធ ៦០០០ ។

រួមព្រះ ធម្មក្ខន្ធ ក្នុងព្រះ សុត្តន្តបិដក តាំង៥គម្ពីរ ត្រូវ ២១.០០០ ព្រះ ធម្មក្ខន្ធ ។

១៣ **ព្រះអភិធម្មបិដក** "កាញ្ជី ឬ ភាជន៍ ដាក់តម្កល់ នូវ ព្រះ អភិធម្ម" គឺធម៌អត្ថដ៏ជ្រាលជ្រៅបានដល់ចិត្ត ចេតសិករូប និង និព្វាន ។

## ព្រះអភិធម្មបិដកនេះ បែកជា ៧ គម្ពីរគឺ :

១- ធម្មសង្គណី "កិរិយាពោលរួបរួមនូវធម៌" សំដែងពីធម៌ដែលរួបរួមបញ្ចូលគ្នាជា ៤ កណ្ឌ មាន ចិត្តុប្បាទកណ្ឌ ជាដើមគម្ពីរនេះមានព្រះ ធម្មក្ខន្ធ ២៣០០ ។

២- វិភង្គ (កិរិយាចែក) សំដែងពីចំណែកនូវធម៌ ១៨ កង មាន ខន្ធ ៥ និងអាយតន ១២ ជាដើម គម្ពីរនេះមានព្រះ ធម្មក្ខន្ធ ៦៥០០ ។

៣- ធាតុកថា (កិរិយាពោលនូវធាតុ) សំដែង បរមត្ថធម៌ ដែលសង្គ្រោះរួបរួមជាមួយគ្នាបាន និង សង្គ្រោះរួបរួមជាមួយគ្នាមិនបានជាដើម គម្ពីរនេះមានព្រះ ធម្មក្ខន្ធ ៧០០០ ។

៤- បុគ្គលប្បញ្ញត្តិ (កិរិយាបញ្ញត្តិតែងតាំងនូវបុគ្គលគឺសត្វទាំងពួង) សំដែងពីបញ្ញត្តិ ៦ យ៉ាងមាន ខន្ធប្បញ្ញត្តិ ជាដើម គម្ពីរនេះមានព្រះ ធម្មក្ខន្ធ ៥៦០០ ។

៥- កថាវត្ថុ (ហេតុនៃពាក្យពោលប្រស្នា) សំដែងពីពាក្យពោលសួរចំពោះបុគ្គលប្រុស ស្រីជាដើម គម្ពីរនេះមានព្រះ ធម្មក្ខន្ធ ៧១០០ ។

៦- យមកៈ (ធម៌ជាគូៗ) មានមូល យមកៈ ជាដើម គម្ពីរនេះ មាន ធម្មក្ខន្ធ ៥១០០ ។

៧- បដ្ឋាន (ហេតុ-គតិ) សម្តែងពីធម៌ដែលជាមេជាទីអាស្រ័យនៅនៃធម៌ទាំងពួងមាន ហេតុប្បច្ច័យជាដើម គម្ពីរនេះមាន ធម្មក្ខន្ធ ៨៥០០ ព្រះធម្មក្ខន្ធ បូកជាប់ក្នុងព្រះត្រៃបិដក ត្រូវប្រាំបីម៉ឺនបួនពាន់ (៨៤០០០) ព្រះធម្មក្ខន្ធ ។

ព្រះត្រៃបិដក បានទឹងស្លឹករឹត ឬ ទឹងស្លឹកត្នោត ចែងជា ៣ គម្ពីរធំ ឬ គម្ពីរដើមចែកទៅជាគម្ពីរបន្ទាប់ៗគ្នា គឺគម្ពីរ អដ្ឋកថា, ដីកា, អនុដីកា និង គណ្ឋី ដែលជាគម្ពីរអធិប្បាយសេចក្តីពីគម្ពីរធំ ឲ្យងាយស្តាប់ងាយចូលចិត្តប្រមាណជា៨៣ គម្ពីរ បើគិតជាខ្សែប្រមាណ ៨៣០ ខ្សែ ក្នុង ១ខ្សែៗ មាន ៦៦ សន្លឹក ក្នុងគម្ពីរទាំងអស់នេះបានជាភាសា មគធៈ គឺភាសាអ្នកស្រុក មគធៈ (ភាសាបាលី គឺភាសាមានរបៀប) អំពីព្រះ ពុទ្ធវចនៈ គឺពាក្យរបស់ព្រះពុទ្ធដែលទ្រង់ត្រាស់ទេសនាប្រោសសត្វអស់៤៥ឆ្នាំ ក្នុងពេលដែលទ្រង់បានប្រកបដោយព្រះ សម្មា-សម្ពោធិញ្ញាណ ។ ព្រះពុទ្ធវចនៈទាំងអស់នេះ កាលព្រះបរមគ្រូគង់ធរមាននៅឡើយ ព្រះ មហាសាវ័ក ទាំងឡាយ ៨០ មាន អគ្គសាវ័ក ទាំងពីរ គឺព្រះ សារីបុត្ត និង មោគ្គល្លាន ជាដើម និង សាវ័ក ដទៃៗ បានស្តាប់ បានរៀនទន្ទេញអំពីសំណាក់ព្រះបរមគ្រូ

បានចាំមាត់ទទេមិនបានសរសេរឬចារដាក់ក្នុងស្លឹករឹតឡើយ ព្រោះលោកទាំងនោះមានញាណទិព្វវិសេសណាស់អាចទ្រទ្រង់ចាំទុកបាន ។

ក្នុងព្រះ ត្រៃបិដក មានគម្ពីរមហាវង្សសំដែងថា ក្រោយព្រះពុទ្ធអង្គ បរិនិព្វានដែលសាងព្រះពុទ្ធសករាជបាន ៤ ខែ នោះព្រះសង្ឃបានប្រជុំគ្នា ៥០០ ព្រះអង្គធ្វើសង្គាយនា គឺ :

បឋមសង្គាយនា ( សង្គាយនា ទី ១ ) នៅថ្ងៃ ១ រោច ខែស្រាពណ៍ ឆ្នាំម្សាញ់ ( មុនគ្រឹស្តសករាជបាកំង ៥៤៣ ឆ្នាំ ) ក្នុងរាជព្រះបាទ អជាតសត្រូវ ព្រះចៅក្រុងរាជគ្រឹះ ព្រះមហា កស្សបត្ថេរ ជាអ្នកសួរ ព្រះ ឧបាលិត្ថេរ ជាអ្នកឆ្លើយនូវព្រះ វិន័យ និង អានន្ទត្ថេរ ជាព្រះអនុជដ៏ជូនមួយនឹងព្រះសម្មាសម្ពុទ្ធ ហើយជា ពហុស្សូត្រ ជាអ្នកប្រាជ្ញ អធិប្បាយនូវ ព្រះសូត្រ និង ព្រះអភិធម្ម ដែលគង់ព្រះជន្មនៅក្រោយព្រះពុទ្ធអង្គ បានប្រជុំអរហន្ត ៥០០ អង្គ ទេសនា សង្គាយនា ព្រះ ត្រៃបិដក ៧ ខែចប់ ។

ទុតិយសង្គាយនា ( សង្គាយនា ទី ២ ) ព្រះពុទ្ធសករាជ ១០០ ត្រូវ ៤៤៣ ឆ្នាំ មុនគ្រឹស្តសករាជបាកំង ក្នុងរាជព្រះបាទ កាលាសោក ព្រះចៅក្រុងវេសាលី ឬ ពៃសាលី ព្រះ អរហន្ត ទាំងឡាយមានព្រះ យសកាកណ្ឌបុត្តត្ថេរ និង ព្រះសព្វកាមិត្ថេរ ជាដើមបានរៀបធ្វើ ទុតិយសង្គាយនា និមន្ត អរហន្ត ៧០០ អង្គ មកទេសនាព្រះ ត្រៃបិដក ៨ ខែចប់ ។

តតិយសង្គាយនា (សង្គាយនា ទី ៣) ព្រះពុទ្ធសករាជ ២៣៥ គឺ ៣០៨ ឆ្នាំ មុនគ្រិស្តសករាជបារាំង ក្នុងរាជព្រះបាទ ធម្មាសោក ព្រះចៅក្រុងបាដលិបុត្រ ព្រះអរហន្ត ទាំងឡាយ ១០០០ អង្គមានព្រះ មោគ្គលិបុត្តតិស្សត្ថេរ និងព្រះ មជ្ឈន្តិកត្ថេរ ជាដើមបានប្រជុំគ្នារៀបធ្វើ តតិយសង្គាយនា ព្រះត្រៃបិដក ជាគម្រប់ ៣ ស្រេចក្នុងវត្តអសោការាម ៩ ខែស្រេច ។

ចតុត្ថសង្គាយនា (សង្គាយនា ទី ៤) ព្រះពុទ្ធសករាជ ២៣៨ ថ្ងៃ ១៥ កើតខែកត្តិក ៣០៥ មុនគ្រិស្តសករាជបារាំង ក្នុងរាជព្រះបាទ ទេវានំបិយតិស្ស ព្រះចៅក្រុងលង្កា ព្រះមហា មហិន្ទត្ថេរ និង ព្រះមហា អរិដ្ឋត្ថេរ បានប្រជុំធ្វើ តតិយសង្គាយនា មាន អរហន្ត ៦៨០០០ អង្គ ក្នុងវត្តថូបារាម១ឆ្នាំទើបចប់ព្រះ ត្រៃបិដក ។

ព្រះពុទ្ធសករាជ ៣៧៦ គឺ ៣៦៧ ឆ្នាំមុនគ្រិស្តសករាជបារាំង ក្នុងរាជព្រះបាទ ទុដ្ឋគាមណីអភ័យ ព្រះចៅក្រុងអនុរាធបុរី បានសាងព្រះវិហារមួយធំ ៩ ជាន់ មានប្រាសាទ៩ ហើយបានធ្វើបុណ្យឆ្លងព្រះវិហារនេះ ហើយបាននិមន្ត ឲ្យអរហន្តជាច្រើនណាស់ ។

បញ្ចមសង្គាយនា (សង្គាយនា ទី ៥) ព្រះពុទ្ធសករាជ ៤៣៣ គឺ ១១០ ឆ្នាំ មុនគ្រិស្តសករាជបារាំង ព្រះបាទវដ្ដគាមណីអភ័យ ក្រុងលង្កា ប្រជុំធ្វើបញ្ចមសង្គាយនា ព្រះអរហន្ត១០០០អង្គឲ្យ

ប្រែព្រះត្រៃបិដក ជាភាសាសឹងហ៊ុន (សីហលភាសា) ហើយចារទឹង ស្លឹករឹត ១ ឆ្នាំបានស្រេច រួចឲ្យទេសនាបាន ១២ ឆ្នាំដល់ទ្រង់ព្រះទិវង្គតៗ ក្នុងរវាងព្រះពុទ្ធសករាជ ៩៥៦ (៤១៣ ឆ្នាំ មុនគ្រិស្តសករាជបារាំង ក្នុង រាជមហានាម ព្រះចៅក្រុងលង្កាមានត្រកូលព្រាហ្មណ៍ ១ រូបកើតក្នុង កណ្តាលជំពូទ្វីប ជិតដើមពោធិព្រឹក្ស ដែលព្រះសមណគោតម បានត្រាស់ ជាកណ្តាលពីនគរពារាណសីទៅនគរសាវត្ថី និងនគររាជគ្រឹះ ត្រកូលព្រាហ្មណ៍នោះប្រកបដោយតម្រិះប្រាជ្ញាខ្ពស់បានរៀនសិល្បសាស្ត្រ ព្រះត្រៃបិដក ដូចព្រះពុទ្ធអង្គព្រះរេវត ថេរ ជាគ្រូបានដាក់នាម ព្រាហ្មណ៍នោះ ជាព្រះ ពុទ្ធឃោសា គឺមានសម្លេងពីរោះ ដូចព្រះសម្មា-សម្ពុទ្ធ ហើយចាត់ប្រើឲ្យនិមន្តទៅចម្លងគម្ពីរព្រះត្រៃបិដក ក្នុងក្រុង លង្កា សេចក្តីចម្លងនោះបានចារទឹងសាស្ត្រាស្លឹករឹតជាភាសាមគធ: ឬ បាលី បានរក្សាទុករៀងមកដល់បច្ចុប្បន្នយើងនេះ អ្នកប្រាជ្ញព្រះពុទ្ធ-ឃោសា បានប្រែជាភាសាខេមរៈភាសារបស់យើង សព្វថ្ងៃនេះមានតាំង ពីក្នុងជាន់អ្នកប្រាជ្ញនោះ គិតមកដល់ឆ្នាំថោះសប្តស័កត្រូវនឹងគ្រិស្តសករាជ ឆ្នាំ ១៩១៥ បាន ១៥០២ ឆ្នាំហើយ ៗ

ក្បួនវិជ្ជាកិច្ចការគ្រប់ជំពូក កើតមកពីព្រះត្រៃបិដក បានជាធ្វើ ឲ្យយើងគិតរៀបតាក់តែង ឲ្យបង្កើតជាវិធីសិក្សាព្រះត្រៃបិដក ដោយ ត្រឹមត្រូវឡើងវិញ ដូចយើងបានសម្រេចបញ្ញត្តិក្នុងព្រះរាជប្រកាសលេខ

២៩ គឺថ្ងៃ ៦ ៗ ១២ ខែទុតិយាសាឍ ឆ្នាំកោឯកស័ក ព្រះពុទ្ធសករាជ ២៤៩២ ត្រូវនឹងថ្ងៃ ១៣ ខែកក្កដា ឆ្នាំ ១៩៤៨ បង្កើតសាលា បរិយត្តិ ជាន់ខ្ពស់ បង្រៀនព្រះពុទ្ធសាសនា ក្នុងក្រុងភ្នំពេញ ក្នុងព្រះឧបោសថព្រះកែវមរកត និងសាលារៀនមួយទៀត នៅក្នុងប្រាសាទនគរវត្ត ខេត្តសៀមរាប តែរបៀបក្នុងខេត្តនេះមិនបានសម្រេច ព្រោះគ្មានបច្ច័យរៃដាក់មុខគ្រូឲ្យយើងស្តាយជាពន្លឹក ព្រោះជាចំណេះខ្ពស់ប្រសើរ ដែលគួរណាស់ជាទីតាំងឡាយ ការធ្វើឲ្យមានអ្នកប្រាជ្ញជួយមនុស្សទាំងដើម ដែលលោកព្រះ ក្រៃមិងគត បានតាក់តែងក្បួនផ្សេងៗទុកមកដល់យើង គឺត្រូវមានសម្តែងអំពីវិជ្ជាទាំង៣ ជាស្ថានយើង ស្ថានសួគ៌ និង ស្ថាននរក ត្រូវគេសម្តែងអំពីហេតុទាំង ៣ មានឧបជាយ៍ ស្រៀងនិង ក្បួនគេឡូ ហើយបានដាក់ក្នុងច្បាប់ពុទ្ធចក្រ ព្រះវិបស្សនា និង កម្មដ្ឋាន និងក្រិត្យវិន័យផ្សេងៗ សម្រាប់មហាជនទាំងឡាយ ។

សាលា បរិយត្តិ ព្រះ ក្រៃមិងគត នៅនគរវត្ត បានរៀបពិធីសម្ពោធនៅថ្ងៃ ៣ ១៥ ១០ ឆ្នាំកោឯកស័ក ព្រះពុទ្ធសករាជ ២៤៩២ ត្រូវនិងថ្ងៃ ២៨ ខែសេតម្ប្រ៏ឆ្នាំ ១៩៤៨ តែ ៦ ឆ្នាំក្រោយមកបានលើកលែងព្រោះឥតសោហ៊ុយ ។

គ្រានោះ មានសេចក្តីអធិប្បាយ ៦ ច្បាប់បានថ្លែងក្នុងការសាទរ គឺពីសម្តេចព្រះមហាសង្ឃរាជ សង្ឃនាយក (ជៀង) និងពីរយើងមួយនោះយើងបានថ្លែងសេចក្តីថា ៖

"សូមទ្រង់ព្រះមេត្តាប្រោស ព្រះករុណាព្រះបាទសម្តេចព្រះស៊ីសុវត្ថិ ចមចក្រពង្សព្រះចៅក្រុងកម្ពុជាធិបតី ជាអម្ចាស់ជីវិតលើត្បូងសូមជម្រាប លោកឡឺគ្លូវរ៉េណឺហ្សេណេកែល (គ្រោប៊ុយគូវស្គី) លោកឡឺវ៉េស៊ីដង់សុ-ប៉េរីយើ (លុស) មុនទិនបើកសាលា បរិយត្តិ ព្រះបាលីនេះ ដែលទើបបង្កើតនៅអង្គរនេះ ទូលព្រះបង្គំជាខ្ញុំ សូមក្រាបថ្វាយបង្គំទូលថ្វាយ និងសូមជូនសេចក្តីគោរពដោយប្រតិបត្តិ ពីអ្នកទាំងអស់ដែលបានមកជួបជុំនៅទីនេះជាតំណាងក្រុមសង្ឃ ក្រុមព្រះរាជវង្សានុវង្ស និងរាជការដែលទូលព្រះបង្គំជាខ្ញុំ ជាដើមខ្មែរនិងបណ្ដារាស្ត្រ ហើយសូមក្រាបបង្គំថ្វាយ និងសូមជូនសេចក្តីប្រាកដជាច្បាស់ដោយសុចរិតស្មោះសរពើយើងខ្ញុំគ្រប់គ្នា ។

ត្បិតមានបញ្ញត្តិ ១ រាជការអស់មហាជនចូលចិត្តស្រុះស្រួលណាស់ ហើយជាសំខាន់ទីបំផុតដែលទើបបានសម្រេច ក្នុងផែនដីដ៏ពិសេសរបស់ព្រះករុណា ត្រូវនឹងថ្ងៃ ១៣ ខ្ទិត ជាន់ក្រោយបង្កើតសាលា បរិយត្តិជាន់ខ្ពស់នៃព្រះពុទ្ធសាសនា ១ នៅក្នុងក្រុងភ្នំពេញ និង ១ នៅទីក្រុងមៀងចាស់ខ្មែរនៅអង្គរ ហើយគាត់តែងរបៀបសិក្សានេះទឹងឲ្យអ្នករៀនប្រឡងដោយត្រឹមត្រូវ ។

សេចក្តីសិក្សាដែលគេក្រណាស់ ហើយអ្នកបួស និងឧបាសកពុទ្ធ-សាសន ខេមរៈដែលកាន់ខ្ជាប់ ប្រាថ្នារៀនឲ្យចេះព្រះ ត្រៃបិដក ជាក្បួនព្រះសាសនា ដែលព្រះពុទ្ធជាអម្ចាស់បានទ្រង់សាង នេះជាបំពេញ

ក្នុងក្រុងភ្នំពេញ ការដែលបង្រៀនក្នុងវត្តធំ ៗ ក្នុងក្រុងយើង តែមិនបាន
រៀបច្បាប់ ហើយគិតតន្ទួងបណ្ដាជនឲ្យទៅនៅឯអង្គរ ដើម្បីនឹងឲ្យកើត
សមនោគ្រួ ឲ្យកុះករឡើងវិញ ក្នុងដំបន់នេះ ដែលដើមឡើយជាមហា
នគររុងរឿង ដូចមានប្រាសាទជាប្រសើរអស្ចារ្យដែលបាក់បែកនៅជាកសិណ
សព្វថ្ងៃនេះស្រាប់ហើយដែលយើងប្រាថ្នានឹងគាក់តែងឡើងវិញ សេចក្ដី
ប្រាថ្នារបស់យើង គឺនឹងតបថ្នែរពីក្រុងសៀមដែលបង្រៀនបាលី ក្នុងខាង
កាដការទំនុកបំរុង បានធ្វើឲ្យសៀមកើតជាអ្នកមានតម្រិះវិជ្ជាប្រាជ្ញាក៏ថ្វា
យើងគិតបង្វែរកុំឲ្យព្រះសង្ឃ និងឧបាសកខ្មែរទៅរៀនបំពេញព្រះត្រៃបិ-
ដក ជាប្រក្រតីក្នុងក្រុងសៀមទៀត ព្រោះនៅតែទៅគ្មានឈប់ ដោយ
ក្នុងស្រុកយើងគ្មានកន្លែងរៀនព្រះត្រៃបិដក ដែលរៀបជាត្រឹមត្រូវ ពី
រាជការក្រុងកម្ពុជាបានស្គាល់ទុកជាប្រាកដនោះគ្មាន ព្រះពុទ្ធបញ្ញត្តិ ព្រះ
បរមគ្រូរបស់យើង ដែលមានពុទ្ធសករាជតាំងពី ២៤៧៤ ឆ្នាំនោះ បានបារ
នឹងស្ទឹកតែ ច្រើនពាន់សាស្ត្រាដែលមានគម្ពីរខ្វះយកមកតម្កល់នៅមុខព្រះ
ភក្ត្រនៅនេះសម្រាប់ឲ្យរៀនបំណេះថ្នាក់លេខ១ ដូចមានបញ្ញត្តិក្នុងព្រះរាជ
ប្រកាសរបៀប គម្ពីរនេះ សម្ដែងពី ព្រះសូត្រ ព្រះវិន័យ និង ព្រះ
អភិធម្ម ជាសិល្បសាស្ត្រ សម្រាប់ជួយបុរសតាំងខ្លួន ឲ្យចំរើនវិជ្ជា
បំណេះនិងតម្រិះប្រាជ្ញាសព្វគ្រប់ ហើយឲ្យភាសាខ្មែរមានសព្ទបរិបូណ៌និង
ពិរោះឡើង បើរៀនបានកាន់តែជ្រៅទៅ តម្រិះប្រាជ្ញាក៏កាន់តែចំរើនឡើង

នៅកាន់សេចក្ដីត្រឹមត្រូវ ព្រោះអដ្ឋកថានិងគម្រោយគេទុកពន្យល់ពាក្យខ្ពស់ និងប្រយោជន៍ក្រៃលែង សឹងមានក្នុងសាស្ត្រាសេសពាំងនោះ ជាភាសា សំស្ក្រឹត បាលី ត្រូវរៀនប្រែមកជាភាសាខ្មែរយូរក្រៃល ក៏ប៉ុន្តែគង់តែរៀន បេះបានសម្រេច ដូចឃើញថាកដការបានគិតនេះពេញត្រូវណាស់ ដែល បញ្ញត្តិឲ្យរៀនបាលី ទុកជាត្រូវការបំពេញចំណេះ សេចក្ដីសិក្សា ចំណេះ ព្រះខេត្តសម្រាប់អស់អ្នកដកការគៅមុខ ឲ្យឃ្លាតស្ងាត់ ហើយនិងបង្ហាញ ក្បួនគម្រា មហាប្រាសាទវាំងនោះឲ្យឃើញច្បាស់ឡើង បើរៀនបេះចង យល់ក្តីប្រាកដហើយ គោន ១ ថ្ងៃនិងគាបលើកលែងបែកគ្នាជាពីរពួក គឺ គណៈមហានិកាយ និង គណៈធម្មយុត្តិ សព្វថ្ងៃនេះ ដើម្បីនឹងឲ្យមានតែ គណៈ ១ ឲ្យត្រឹមត្រូវជាទី បំផុត និង ប្រកាសព្រះពុទ្ធសាសនាឲ្យពេញជា បរិសុទ្ធ ក្នុងកម្ពុសាសន ទូលព្រះបង្គំជាខ្ញុំជាតំណាងកដការនៃ ព្រះនគរ ដែលព្រះករុណាទ្រង់ជាអធិបតីជាមួយនឹងលោកឡឺគូវែរណើរយេណេរ៉ាល់, (Le Gouverneur général) និងលោក ឡឺរេស៊ីដង់ស៊ុបេរីយើ ( Le réci-dant Supérieur ) ទូលព្រះបង្គំជាខ្ញុំ សូមឲ្យទទួលសេចក្ដី ដែលយើង ខ្ញុំសោមនស្សរាយសោកទ់ សូមអំណរព្រះគុណដោយគោរពនិង សុចរិត ជាទីបំផុត ដែលបានទ្រង់មេត្តាប្រោសស្ដេចយាងមកទីនគស់ លោក បានអញ្ជើញមកបើកមុខជាកិត្តិយសពិធីបុណ្យនេះ ដែលខ្មែរ ទាំងអស់រាប់អាន ទុកជាមានតម្លៃធំណាស់ និងកត់ត្រាទុកក្នុងប្រវត្តិ ក្សត្រិយ៍ ក្រុងកម្ពុជាធិបតី តទៅ ។

សូមតេជៈដែលព្រះករុណាទ្រង់ព្រះមេត្តាប្រោសឲ្យឃើញជាបន្ទាល់ក្នុងសម័យនេះ និងកុសលផលទាន ដែលបានរៀបចាត់តែងពិធីបុណ្យក្នុងឱកាសនេះ បណ្ដាលឲ្យការប្រយោជន៍ខ្ពស់នេះ បានសម្រេចដូចសេចក្ដីប្រាថ្នា ជាមហាប្រសើរតទៅអនាគត ។



ព្រះរាជាធិប្បាយ នៃសម្ដេចព្រះមហាសង្ឃរាជា សង្ឃនាយក បានថ្លែងដូចមានខាងក្រោមនេះ ៖

សូមថ្វាយព្រះពរ

សូមចំរើនពរដល់លោក ឡឺគូវែរណើរហ្សេណេរ៉ាល់ លោក ឡឺរ៉េ-ស៊ីដង់សុប៉េរីយើរ ។

ព្រះជន្មអាត្មាភាព ចាស់ដល់ ៨៦ ឆ្នាំហើយ ធ្វើឲ្យអាត្មាភាពស្ដាយខ្លាំង ដោយពុំបានមកទទួលខ្លួន សូមចំរើនថ្វាយព្រះពរដល់ព្រះអង្គព្រះករុណា និង លោក ឡឺគូវែរណើរហ្សេណេរ៉ាល់ និង លោក ឡឺរ៉េស៊ី-ដង់សុប៉េរីយើរ ក្នុងក្រុមមឿងខ្មែរបូកណោនេះ ។

អាត្មាភាពស្របតាមសេចក្ដី ដែលប្រាថ្នាជាទីបំផុតរបស់ខ្មែរមិនបាន ក៏អាត្មាភាព បានចាត់ជាគណៈ មកតំណាងអាត្មាភាពនៅទីនេះ ហើយឲ្យមកនិមន្តអស់ភិក្ខុសង្ឃក្នុងដែនបាត់ដំបង ឲ្យមកជួបជុំ ដូចពិធីសម្ពោធសាលា បរិយត្តិ ជាទីខ្ពស់ របស់ព្រះពុទ្ធសាសនា និង បុណ្យសន្ធា-ជាធំ ដែលព្រះករុណាទ្រង់ព្រះមេត្តាប្រោស គាត់តែងក្នុងប្រាសាទ បុរាណតាំងនេះជាបន្ទាល់ ឲ្យឃើញថ្មីដែ និងសេចក្ដីចំរើនរុងរឿង របស់

ជាតិខេមរៈពីបុរាណ ។

អាត្មាភាពនិងរាជាគណៈ សូមថ្វាយព្រះពរអំណរព្រះតេជគុណព្រះករុណា និងរាជការប្រតិកត្តិ៍បាកំងសែស ដែលមេត្តាជួយឧបត្ថម្ភក្រុងកម្ពុជាធិបតី និងបានធ្វើឧបការឲ្យកើតពន្លឺដល់បណ្ដារាស្ត្រ ដោយសិក្សាព្រះបាលី ព្រះត្រៃបិដក ដែលមានក្បួនព្រះពុទ្ធ គោតមជាអម្ចាស់ដ៏ទ្រង់ទិព្វញាណ ប្រាជ្ញាឲ្យចំរើនសតិបញ្ញា ជាប្រយោជន៍ ក្នុងលោកិយនិងទៅបរលោក ។

ក្នុងរាជព្រះបាទសម្ដេចព្រះ ហរិរក្សរាមាឥស្សរាធិបតីព្រះបរមកោដ្ឋ ជាសម្ដេចព្រះវររាជបិតា ទ្រង់ទសពិធរាជធម៌ បានទ្រង់ព្រះមេត្តាប្រោស រាប់អានអ្នកប្រាជ្ញរាជបណ្ឌិតជាទីបំផុត ព្រះមហាក្សត្រាធិរាជព្រះអង្គនេះ បានទ្រង់ចេះក្បួនព្រះពុទ្ធសាសនាពន្លឹក ដោយទ្រង់ប្រាជ្ញាឲ្យកាន់ព្រះពុទ្ធសាសន៍ ឲ្យត្រឹមត្រូវជានិច្ចតាមក្រិត្យវិន័យ ពីអ្នកចាស់បុរាណនោះ បានទ្រង់ព្រះមេត្តាប្រោស តាំងអ្នកប្រាជ្ញមួយក្រុម ឲ្យប្រែនិងបង្រៀនសំស្ក្រឹត តាមក្បួនព្រះពុទ្ធ ហើយបានទ្រង់តាំងក្រុមដ៏ទៃមួយក្រុម ឲ្យពិនិត្យដេញប្រយោគអ្នករៀនសំស្ក្រឹតនិងឲ្យរៀបតែងធម្មសព្ទ គឺសព្វវចនៈ និងច្បាប់សម្រាប់ព្រះនគរ ដែលគិតបំពេញចំណេះសតិអ្នកនគរ ដូច្នេះជាត្រឹមត្រូវនឹងព្រះពុទ្ធបញ្ញត្តិណាស់ ។

ព្រះករុណាព្រះបាទសម្ដេចព្រះ ឧភោត្តម ព្រះចៅក្រុងកម្ពុជាធិបតី ព្រះសុវណ្ណកោដ្ឋ ក៏បានទ្រង់មានព្រះរាជហឫទ័យទុកដាក់ និងព្រះពុទ្ធ

សាសនា តែពុំបានទ្រង់ធ្វើតាមត្រូវការឲ្យរៀបសាលារៀនបាលី បណ្ណា-ពស្ត្របស់ព្រះអង្គ ទាំងព្រះសង្ឃនិងឧបាសកដែលកាន់ខ្ជាប់ក្នុងព្រះពុទ្ធ-សាសន៍ ក៏បានរៀន ព្រះត្រៃបិដកខ្លះ ក្នុងក្រុងភ្នំពេញ ខ្លះក៏ទៅរៀនក្នុងក្រុងបាងកក (នគរសៀម) ដែលសេចក្ដីបង្រៀននេះបានរៀបត្រឹមត្រូវហើយ មានកេងរៀន បរិបូណ៌ទៅដោយសាស្ត្របាលីមានជាច្រើន ។

សម័យនេះ ព្រះករុណាទ្រង់ប្រកបដោយព្រះរាជកិរិយាមហាប្រសើរហើយជឿជាក់គ្រប់ប្រការ ក្នុងព្រះពុទ្ធសាសនា រកមហាក្សត្រិយ៍ឯណាមកប្រៀបផ្ទឹមពុំបានពីសេចក្ដីសប្បុរស និងព្រះរាជហឫទ័យ ទ្រង់ព្រះមហាករុណាដោយសព្វព្រះរាជហឫទ័យ ទ្រង់ឧបត្ថម្ភទំនុកបំរុងព្រះសាសនា និងទ្រង់ព្រះមេត្តាប្រោសពកានអស់អ្នកចេះដឹងក៏បានប្រារព្ធ ព្រមទាំងកុងស៊ីលសេនាបតី ហើយបានទ្រង់ព្រះបញ្ញាដោយព្រះរាជប្រកាសចុះថ្ងៃ ៦ ៗ ៨ ១២ ឆ្នាំរកាឯកស័ក ត្រូវនឹងថ្ងៃ ១៣ ខែវិច្ឆិកឆ្នាំ ១៩០៩ បង្កើតសាលារៀនក្នុងក្រុងភ្នំពេញមួយនិងសាលាក្នុងអង្គរមួយឲ្យសិក្សាបំណេះខ្ពស់ព្រះបាលីនេះហៅពេញជាប្រសើរស្មោះតែអាត្មាភាព ក្នុងគ្រានេះសឹងនឹកទៅដល់ក្រុងបារាំងសែស ដែលទំនុកបំរុងជាពិសេស បានគិតឲ្យបានខេត្តបាស់ បាត់ដំបងនិងសៀមរាប មកក្រុងកម្ពុជាធិបតីវិញ នេះឃើញជាសេចក្ដីចំណង់របស់យើង បានសម្រេចសេចក្ដីប្រាថ្នាហើយ ។

ដោយឃើញថាទ្រង់ព្រះករុណា និងរាជការប្រូតិកតូរ៉ាបារាំងសែសមេត្តាជួយទំនុកបំរុង សព្វគ្រប់ជាប្រក្រតី នេះអាត្មាភាពនូវព្រះសង្ឃនិង

បណ្ដារាស្ត្រក៏សង្ឃឹមថាក្រុងកម្ពុជាធិបតីបានថ្កើងរុងរឿងបរិបូណ៌ ហើយ អ្នកនគរក៏នឹងបេះដូងមួយថ្លៃមិនខាន ។

សេចក្ដីដែលទ្រង់ព្រះករុណា និងរាជការប្រតិកត្តួក មេត្តាទំនុកបំរុងរាស្ត្រខ្មែរ ដោយសុចរិតនេះ ជាឥតអ្វីផ្ទឹមបាន សេចក្ដីអធិប្បាយនៃអាត្មាភាព ដោយស្មោះចំពោះពិត នេះឃើញនឹងសេចក្ដីដែលយើងទាំងអស់ស្គាល់ព្រះគុណរាជការណាស់ ។

ដូច្នេះសូមអនុញ្ញាត ឲ្យអាត្មាភាព និងព្រះរាជាគណៈសង្ឃសូត្រធម៌នមស្សការព្រះជាម្ចាស់ ដែលរក្សាក្រុងកម្ពុជាធិបតីសូមឲ្យជួយទ្រទ្រង់ព្រះអង្គព្រះករុណាឲ្យបានព្រះជន្មស្សាចំរើនជាអង្វែង ហើយសូមឲ្យទ្រង់រាជសម្បត្តិ ឲ្យបានសេចក្ដីសុខក្សេមក្សាន្ត កុំបីមានសត្រូវណាមកបៀតបៀនបានឡើយ ទាំងលោកគូវែរណើហ្សេណេរ៉ាល ក្រាប៉ុយគូវស្គី និងលោកឡឺរ៉េស៊ីដង់សុប៉េរីយើ ប៉ូលលុស នូវញាតិរបស់លោក ក៏សូមឲ្យប្រកបដោយ អាយុ វណ្ណៈ សម្បូណ៌សម្បត្តិ និងល្បីឮកេរ្តិ៍ឈ្មោះដាច់ ទាំងតេជានុភាពក្រុងបារាំងសេសក៏ឲ្យផ្សាយ ទៅដល់នានាប្រទេសជិតឆ្ងាយឲ្យស្ញប់ស្ញែង ។

សាលារៀនបាលីឧត្តមព្រះពុទ្ធសាសនាបានរៀប និងសម្ពោធក្នុងវត្តព្រះកែវមរកតក្រុងភ្នំពេញ នៅថ្ងៃ ១ ៨ ឆ្នាំថោះសប្តស័កត្រូវនឹងថ្ងៃទី ២៥ ស្ទុយ៉ែត ១៩១៥ មានព្រះករុណាព្រះបាទសម្ដេចព្រះ ស៊ីសុវត្ថិ ចមចក្រពង្ស ព្រះចៅក្រុងកម្ពុជាធិបតី បានស្ដេចយាង និងលោករ៉ូម គូវែរ

ព្រះ សិអាមេត្រី ព្រះពុទ្ធតទៅមុខ ។ មានសេចក្តីនិទានថាមានក្អែកស ១ គូឈ្មោលញី មានសំបុក ១ លើដើម ឧទុម្ពរ ( គឺដើមល្វា ) ជិតឆ្នេរស្ទឹង ១ ក្នុងសំបុកនោះមានស៊ុត ៥ ក្នុងវេលាដែលសត្វទាំង២ទៅរកអាហារចិញ្ចឹមជីវិត កើតព្យុះព្យោមា ធ្វើឱ្យធ្លាក់ស៊ុតនោះពីសំបុកទៅក្នុងស្ទឹង ហើយស៊ុតនោះក៏អណ្តែតលើទឹក រសាត់ទៅលើផ្ទុកច្រាំង គ្រានោះមានមាន់ញី ១ នាគញី ១ អណ្តើកញី ១ គោញី ១ និងខ្លាធំញី ១ រើសបានស៊ុតក្អែកស ទាំង ៥ យកទៅលំនៅនៃខ្លួនថែរក្សា ដោយយកចិត្តទុកដាក់ ។

លុះដល់កំណត់ជាធម្មតា ពងនោះក៏ញាស់កើតជាបុរស ៥ អង្គ រូបរាងល្អប្រពៃណាស់ ដល់ចំរើនធំឡើង ក៏លាមាតាចិញ្ចឹមរៀង ៗ ទៅកាន់សីលនិងព្រះឥសី បានជួបគ្នាក្នុងព្រៃហេមពាន្ត (ហិម៉ាឡាយ៉ា) ប្រាថ្នានឹងត្រាស់ជាព្រះពុទ្ធ ហើយនឹងចូលព្រះនិព្វាន ឯសត្វមាតាចិញ្ចឹម ក៏បើកឱ្យបុត្រទៅអភិនេស្ក្រមណ៍ ដោយនៅស្តាយខ្សែកខ្លួនជាទីបំផុត បានផ្តាំបុត្រទាំង ៥ ថា បើដល់បានត្រាស់ជាព្រះពុទ្ធជាម្ចាស់វេលាណា ឱ្យដាក់នាមមាតាដើមផងគឺ ១- ព្រះកុក្កុសន្ធោ (មាន់ឈ្មោលប្រសើរ) ២- ព្រះកោនាគមនោ ( នាគចិត្តល្អ ) ៣- ព្រះកស្សបោ (អណ្តើកប្រាជ្ញ) ៤- ព្រះគោតម ឬព្រះសមណគោតម ( គោប្រាជ្ញ ) ៥- ព្រះសិអាមេត្រី ( ខ្លាដែលលះបង់តណ្ហា ) ជាព្រះពុទ្ធតទៅមុខ ។

ដូច្នេះបានជាដល់ជាតិបំផុតដែលបានត្រាស់ជាព្រះពុទ្ធ ក៏បានយកនាមមាតាចិញ្ចឹម ដាក់ព្រះនាមនៃព្រះអង្គ មាតាទាំងនោះ លុះអស់ជន្មាយុទៅ ក៏ទៅកើតជាទេពធីតានៅសួគ៌ ។

ឯមាតាក្អែកសរ លុះវិលមកវិញមិនឃើញស៊ុតរបស់ខ្លួនឡើយ ក៏កើតទុក្ខសន្ទឹកសន្ធៃហើយសោកសង្រេងជាខ្លាំង ទាល់តែក្ស័យទៅបានទៅយកកំណើតឡើងវិញជា ពកាមហាព្រហ្ម បានចុះមកលើក្រឡាមហាប្រឹថពី ជួបនឹងបុត្រទាំង ៥ ដែលបានត្រាស់ដឹងជាព្រះពុទ្ធ ហើយបានបដិញ្ញាពីជាតិដើមគ្រប់អង្គ ក្រោយមកនាងបានទទួលត្រៃព្រះទាំង ៥ ព្រះអង្គកាលទ្រង់ផ្នួសដែលធ្វើឲ្យបានសម្រេចដូចសេចក្តីប្រាថ្នាទីបំផុត ។

ព្រះពុទ្ធទាំង ៥ ត្រូវបានត្រាស់តៗគ្នារៀងទៅ ក្នុងកំណត់កប្ប ឬ កល្ប ហៅ ភទ្ទកប្ប ឬ ភទ្រកល្ប រួចពីនោះកើតនេះកល្បរំលាយលោកិយឲ្យសោះសូន្យ ។



# ធម៌ទេសនារបស់លោកកំម៉ង់ផង់ រូបែរត៍ អំពីពុទ្ធសាសនា នៅស្រុកទីបេត៍ (ចិន) ក្រុមការ ជុំ-មៅ ធ្វើរាជការ ក្នុងព្រះរាជបណ្ណាល័យ ប្រែចេញពីភាសា បារាំងសែសជាខេមរភាសា(១)

## បរិយាយដើម

*លោកកំម៉ង់ផង់រូបែរត៍ ដែលជាចាងហ្វាងសាលាបារាំងសែស-ចិន នៅស្រុកចឹក្វាង (កួសាំងស៊ីន) បានឡើងមកក្រុងភ្នំពេញពីថ្ងៃ ២៩ ខែ អាវ្រិល ឆ្នាំ ១៩២៦ ដើម្បីសំដែងធម៌ទេសនា ក្នុងព្រះរាជបណ្ណាល័យកម្ពុជា ។*

*លោកកំម៉ង់ផង់រូបែរត៍នេះ លោកស្រឡាញ់បណ្ដាជនទាំងអស់ ដែលនៅជុំវិញលោកក្នុងបូព៌ាប្រទេស ហើយលោកខំសិក្សាលទ្ធិពុទ្ធសាសនាដោយជ្រៅជ្រះ តាមគម្ពីរផ្សេង ១ ក្នុងពួកហីនយានក្ដី មហាយានក្ដី លុះដល់ទៅជាអ្នកជឿប្រតិបត្តិពុទ្ធសាសនាយ៉ាងធំ ១ ។*

*តាមធម៌ទេសនាដែលលោកសំដែងនោះ ឃើញថាលោកយល់ច្បាស់ ប្រាកដក្នុងលទ្ធិពុទ្ធសាសនារបស់យើង ។*

*សេចក្ដីដែលលោកសំដែងនោះ ជាភាសាបារាំងសែស ហើយខ្ញុំបាទទទួលប្រែមកជាភាសាខ្មែរដោយសេចក្ដីស្នើរបស់អ្នកស្រីក្រុមការ-*

---

១- អត្ថបទនេះ ស្រង់ពីកម្ពុជសុរិយាក្បាលទី ៧-៨-៩-១០-១១-១២ ឆ្នាំ ១៩២៦-២៧ ។

ប៉ែស ជាអ្នកគ្រប់គ្រងព្រះរាជបណ្ណាល័យ ហើយជាចៅហ្វាយរបស់ខ្ញុំ ការដែលប្រែនេះនាំឲ្យខ្ញុំរញ្ញកជាពន្លឹក ដោយខ្លួនខ្ញុំបានសិក្សាភាសាបារាំងសែសនោះស្ដួចស្ដើងណាស់ ទាំងភាសាខ្មែរក៏ចេះតិចដែរ តែដោយធុរកិច្ចប្រកែកក៏ខំយកចិត្តទុកដាក់ធ្វើតាមបង្គាប់ លុះត្រាតែសម្រេចការ ។

សេចក្ដីត្រង់ណាដែលមិនភ្លឺច្បាស់ ហើយអស់លោក-អ្នកទាំងឡាយ មើលមិនយល់នោះ ខ្ញុំសូមឲ្យអត់ទោសដល់ខ្ញុំ ព្រោះការដែលខ្ញុំធ្វើនេះ ខ្ពស់ហួសវិជ្ជាដែលខ្ញុំចេះដឹង ។

ក្រមការ ជុំ-មៅ

ធ្វើរាជការក្នុងព្រះរាជបណ្ណាល័យ

---

# ធម៌ទេសនា

ខ្ញុំមិនប្រាថ្នានឹងអធិប្បាយជូនអស់លោក-អ្នក អំពីព្រះពុទ្ធសាសនា ដែលមាននៅក្នុងបូព៌ាប្រទេសនោះឡើយ ប្រសិនជាខ្ញុំអធិប្បាយ អំពីព្រះពុទ្ធសាសនានេះទៅ ហើយក៏ហាក់ដូចជាខ្ញុំអួតប្រាជ្ញនឹងគេ ហើយត្រូវនឹងពាក្យចំនៀមបុរាណរបស់បារាំងសែស ដែលថាឈ្មោះគ្រាសង់ គាំងខ្លួនជាអ្នកចេះជាងសង្ឃរាជរបស់ខ្លួន ។ ឯពាក្យចំនៀមបុរាណនោះអធិប្បាយទៅថាដូច្នេះ ‘‘ មនុស្សល្ងង់ខ្លៅមិនចេះភ្លឺប៉ុន្មានក្នុងការនោះ ហើយចង់ប្រកួតប្រណាំងការនោះជាមួយនឹងអ្នកប្រាជ្ញ ដែលគេបានសិក្សាតែពីរៀងនោះ ,, ខ្ញុំមានសេចក្ដីសោមនស្សណាស់ទៅហើយ ប្រសិនបើខ្ញុំគាបនឹងអធិប្បាយជូន អស់លោក - អ្នកយ៉ាងខ្លីសមល្មម

ស្តាប់បានអំពីធម៌អាថ៌របស់អ្នក សេចក្តីជឿរបស់អ្នក ពង្សាវតារនៃសាសនារបស់អ្នក ដែលគេបានដឹងស្គាល់ក្នុងប្រទេសអឺរ៉ុប (បច្ចុប្បន្ន-ប្រទេស ឬបច្ឆិមប្រទេស) កាលណាខ្ញុំថាដែលគេបានដឹងស្គាល់នៅក្នុងប្រទេសអឺរ៉ុបនោះ គឺខ្ញុំប្រើពាក្យមិនចំ ព្រោះមានមនុស្សតិចណាស់ដែលបានដឹងស្គាល់ពុទ្ធសាសនា ខ្ញុំត្រូវនិយាយថា មានមនុស្សដែលចង់ចេះដឹងព្រះពុទ្ធសាសនានោះតិចណាស់ពេក ។ បើពាក្យរបស់ព្រះពុទ្ធដូចជាពាក្យសំស្ក្រឹតថា "និព្វាណ" នេះ បានស្គាល់ខ្លះទៅហើយ នោះខ្ញុំមិនមែនគួតដល់សតិបញ្ញារបស់ជាតិ ដែលនៅក្នុងស្រុកអឺរ៉ុបទេ គឺថាឯព្រះពុទ្ធសាសនាក៏មិនទៅណាឆ្ងាយ ក្នុងនគរទាំងឡាយផ្សេងៗ នោះបើជាមានមនុស្សមានស្មារតីបានសិក្សាជ្រៅជ្រះយ៉ាងណា ក៏គង់តែត្រូវ

ឯព្រះពុទ្ធសាសនានោះគេបានដឹងថាមានតាំងពីយូរអង្វែងឆ្នាំមកហើយក្នុងប្រទេសអឺរ៉ុប ដោយពួកអ្នកដំណើរ អ្នកផ្សាយសាសនា និង អ្នកជំនួញនាំសេចក្តីទៅផ្សាយ ។ ឯការដែលរិះរកព្រះពុទ្ធសាសនាក្នុងស្រុកឥណ្ឌា និងបូព៌ាប្រទេសជាដំបូងនោះ អ្នកស្រុកបារាំងសែស ស្រុកអង់គ្លេស និងស្រុក អាល្លឺម៉ាញ ទើបតែនឹងចាប់ផ្តើមជ្រើសរើសឡើង ក្នុងពេលឆ្នាំ ១៩០០ ប៉ុណ្ណោះ គឺតាំងពីពេលដែលមានសេចក្តីប្រាស្រ័យនឹងគ្នាទៅវិញទៅមកជានិច្ច របស់ប្រទេសអឺរ៉ុបនិងប្រទេសអាស៊ី (គឺជាតិដែលស្បែកស និងជាតិដែលមានស្បែកខ្មៅ) ទើបគេបានស្គាល់សេចក្តីជឿរបស់ហិណ្ឌូ និងលទ្ធិពុទ្ធសាសនាប៉ុន្តែដោយមានសេចក្តីប្រែភាសាជាប្រាកដ

អំពីគម្ពីរដីកាទាំងឡាយដែលជាគោលចារឹករបស់សាសនា ទាំងនេះ ក៏មនុស្សដែលជាអ្នកសិក្សា បានអធិប្បាយតែជាសេចក្ដីទុកល់ទាំងអស់និងបំបែកធម៌អាថ៌ទាំងឡាយនេះ ឲ្យបានក្លីច្បាស់មិនបានព្រមទាំងមិនប្រាកដអំពីតម្លៃនៃសាសនានីមួយ ១ ផង ។

ខ្ញុំមិននិយាយអំពីពាក្យបំប៉ូនម៉ាត់ ដែលរ៉ូលតែ បានអធិប្បាយអំពីពុទ្ធសាសនានៅស្រុកទីបេ ក្នុងសេចក្ដីល្បងរបស់គាត់ អំពីទំនៀមទម្លាប់និងសេចក្ដីជឿដែលគាត់តែងក្នុងឆ្នាំ ១៧៣៨ នោះឡើយ ។ គេនឹងភ្ញាក់ប្រាសឡើងបានថា ណាប៉ូឡេយ៉ុង មិនមែនមិនដឹងអំពីសេចក្ដីប្រហែលគ្នាក្នុងពិធីបុណ្យកតូលិក និងពិធីបុណ្យក្នុងព្រះពុទ្ធសាសនានោះឡើយ ដូចមានចារឹកទុកក្នុងសៀវភៅដែលមានសារបានថា "ថ្ងៃក្រោយបំផុតរបស់មហាក្សត្រិយ៍" ប៉ុន្តែឯសៀវភៅជាន់ដើមដែលនិយាយអំពីពុទ្ធសាសនានោះ គឺសៀវភៅទាំងឡាយរបស់អាបែលដឺរ៉េមុយសាត់ ដែលអធិប្បាយអំពីសេចក្ដីផ្សេង ១ ក្នុងបូព៌ាប្រទេសពីឆ្នាំ ១៩២៥ ។

តពីនោះមក កិច្ចការដែលបានប្រមូលផ្ដុំឡើងនាំមិនឲ្យក្រប៉ុន្មានទ គឺការរបស់លោកសៀវអឺសែនប៊ូរនួហ្វ៍ ម៉ាក្សមុល្លែរ បារថេឡេមីសាំងហ៊ីលែរ សេណាត៍ រីសដាវិទ និងមនុស្សឯទៀតជាច្រើន ហើយក្នុងវេលានោះ មានកើតសេចក្ដីប្រកាសដោយត្រឹមត្រូវទៀតក្នុងសៀវភៅធំ ១ របស់ព្រះពុទ្ធសាសនា គឺក្នុងពួកសៀវភៅដែលមានសារបានថា «គម្ពីរដីកាក្នុងបូព៌ាប្រទេស»

ជំនុំអ្នកតែងសៀវភៅ ដែលបានផ្សាយសេចក្ដីជឿក្នុងទិសបូព៌ាទៅក្នុងប្រទេសអឺរ៉ុបនោះ ត្រូវតែសម្គាល់ដូចមានខាងក្រោយនេះ ។

ដើមឡើយគឺអាឡិចសង់ស៊ូម៉ាដឺកោរ៉េសដែលកើតនៅស្រុកហុងគ្រីពីឆ្នាំ ១៧៨៤ ហើយបានសិក្សាភាសាខាងបូព៌ាប្រទេសជាដំបូងបានសិក្សាលទ្ធិសាសនា និងពីជម្ពូជាតិដែលបង្កើតឡើងនិងភូមិសាស្ត្រ ។ នៅវេលាដែលគាត់អាយុបាន ៣៦ ឆ្នាំ គាត់បានចេញពីប្រទេសអឺរ៉ុបមកឥតមានធ្វើទុកក្នុងចិត្តថានឹងត្រឡប់ទៅវិញឡើយ ហើយលុះទំរត់ទ្រាំនឿយព្រួយលំបាកតាមផ្លូវជាអនេកប្រការណាស់ ទើបបានដល់ទៅក្នុងទីបេត៍ កាលពីឆ្នាំ ១៨២២ ។ សេចក្ដីប្រាថ្នារបស់គាត់ថានឹងទៅរកដើមកំណើតរបស់ស្រុកហុងគ្រីនៅក្នុងទីនោះ តែលុះបានទៅប៉ះពាល់ដល់ព្រះពុទ្ធសាសនា គាត់ក៏ភ្លេចសេចក្ដីប្រាថ្នារបស់គាត់កាលគ្រាមុននោះដោយមួយរំពេច ហើយក៏ចូលទៅនៅក្នុងអារាមផ្សេង ៗ ជាច្រើនឆ្នាំ ទំរៀនភាសា រៀនលទ្ធិសាសនា រៀនគម្ពីរដីកា ទើបបានផ្សាយទៅក្នុងស្រុកអឺរ៉ុបជាដំបូងគម្ពីរដែលគាត់បានរៀន ដែលមានឈ្មោះហៅថាកណ្ជូរ និង តណ្ជូរ ដែលជាគម្ពីរដីការបស់ពួកមហាយាន ជាក្រោយដែលមានដំណើរចូលមកក្នុងស្រុកតណ្ហានេះ អ្នកប្រាជ្ញជាតិអឺរ៉ុប ដែលចូលមកជាដំបូងក្នុងបូព៌ាប្រទេសនេះ ក៏មរណភាពទៅដោយឈឺគ្រុន នៅវេលាដែលគាត់ត្រឡប់ចូលទៅស្រុកទីបេត៍វិញដោយដើរនិងដើរកាត់ដងភ្នំហិម៉ាឡាយ៉ា ។

តមកទៀត គ្រូកប់អុលដិនប៊ែរ បញ្ចូលធំ ពិតមែនតែសៀវភៅទាំងឡាយ ដែលគាត់តែងអំពីពុទ្ធសាសនា ជាភាសាអាល្លឺម៉ង់នោះមានសេចក្ដីកត់កាយរប៉ាត់រប៉ាយ ហើយចង្អៀតបន្តិចតែសៀវភៅទាំងនោះនឹងយកជាគោលចារឹកដល់ជាតិអឺរ៉ុប ដែលមានប្រាថ្នានឹងសិក្សាក្នុងផ្លូវពុទ្ធសាសនានោះបាន ។

ខាងក្រោយនេះខ្ញុំនឹងកប់បញ្ចូលដោយឡែកទៀត សៀវភៅរបស់ម៉ាដាមអាឡិចសង់ដ្រាដាវិដ ដែលធ្វើពីឆ្នាំ១៩១១ តាមសេចក្ដីយល់ឃើញរបស់ខ្ញុំ ថាសៀវភៅនេះ អាចនឹងនាំឲ្យបម្រើនយ៉ាងរហ័សដល់វិជ្ជាយើងដែលចំសិក្សាខាងធម៌អាថ៌របស់អ្នក ។

ម៉ាដាមអាឡិចសង់ដ្រាដាវិដ ជាតិជាបារាំងសែសក្រែងតែទៅនៅក្នុងដំបន់ដែលគេមិនទាន់បានទៅ គឺដំបន់ដែលនៅជាចន្លោះក្ដីរបស់ស្រុកឥណ្ឌានិងស្រុកចិន សៀវភៅរបស់គាត់ដែលមានសារបានថា «អំពីពុទ្ធសាសនាថ្មី និងពុទ្ធសាសនារបស់ព្រះពុទ្ធ» នោះឃើញជាក់ស្ដែងអំពីសេចក្ដីនេះឥតមានចូលប្រឡុំទៅក្នុងរឿងក៏ជាពង្សាវតារ ជាផ្លូវសាសនាឬជាវិជ្ជាធម៌អាថ៌ឡើយ ម៉ាដាមអាឡិចសង់ដ្រាដាវិដ បានរៀនធម៌អាថ៌ក្នុងពុទ្ធសាសនា ហើយចំសង្កេត លុះដល់ដឹងពាក្យរបស់ព្រះពុទ្ធ ហើយទំរិះរកសេចក្ដីអធិប្បាយជាពិតនោះ ដោយបោះបង់ចោលពាក្យឯណាដែលជាពាក្យបន្ថែមក្រែងក្លាយចូលមក ដោយអំណាចពេលវេលាដែលកន្លងផុតមកជាច្រើនឆ្នាំហើយ គឺជាព្រះពុទ្ធសាសនាដើមបំផុត ហើយពិតប្រាកដ

ដែលធ្វើឲ្យឃើញច្បាស់ចំពោះឡើង ដល់យើងទាំងឡាយ ។

មុននឹងបញ្ចប់សេចក្តីបរិយាយក្នុងបរិច្ឆេទទី ១ នេះ យើងត្រូវសម្គាល់ទុកអំពីស្រុកជប៉ុនទៀត គឺអំពីដែលគេបានខំសិក្សារិះរក ពុទ្ធសាសនាជាច្រើនណាស់ ហើយអ្នកប្រាជ្ញស្រុកជប៉ុននោះក៏បានផ្សាយវិជ្ជា ដែលបានហាត់រៀននោះ ឯក្នុងសេចក្តីផ្សាយទាំងនោះ ឃើញមានត្រូវការដល់ធមិអាចិរបស់ព្រះពុទ្ធ ជាងពង្សាវតាររបស់ព្រះពុទ្ធទៅទៀត ។

ឯធមិអាចិនោះ ដើមឡើយ មានមោនសៀអឺសែនប៊ូរនូហ្វ៍ជាអ្នកប្រែ ហើយផ្សាយទៅក្នុងប្រទេសអឺរ៉ុប គឺគម្ពីរលលិតវិស្តារហើយមានមោនសៀអុលដង់ប៊ែរនិងរីសដាវិទបានរៀនហើយផ្សាយគម្ពីរដីកាផ្សេង ៗ ក្នុងពុទ្ធសាសនានៅស្រុកសីឡង់ (កោះលង្កា) ដែលចារឹកជាភាសាបាលី គឺ តិបិដក គម្ពីរទាំងឡាយនេះ មួយអន្លើនឹងសេចក្តីប្រែឯទៀតផ្សេង ៗ បានបញ្ចូលក្នុងគម្ពីរដីការបស់បូព៌ាប្រទេស ដែលខ្ញុំបានពោលមកហើយនោះ ។

ដើម្បីនឹងជៀសអំពីសេចក្តីនិន្ទា នោះយើងត្រូវនិយាយតទៅទៀតថា បើមានពួកដែលកាន់ខាងសិល្បសាស្ត្រវិជ្ជាការប្តូមន្តអាគម ឧបមាដូចជាពួកដែលប្រព្រឹត្តតាមក្បួនផ្សេង ៗ ហើយតាំងខ្លួនថាជាពួកកាន់ពុទ្ធសាសនានោះត្រូវដឹងថាជាការមិនពិតទេ ដោយវិជ្ជាក្បួនខ្នាតទាំងនោះ សុទ្ធតែខ្ចីមកពីវេទខ្លះ ពីសាសនាព្រាហ្មណ៍ខ្លះ និងពីសាសនានៅស្រុកឥណ្ឌាសព្វថ្ងៃនេះខ្លះ ប៉ុន្តែមិនមែនជាព្រះពុទ្ធសាសនាឡើយ ។

អំពីខាងពុទ្ធសាសនាវិញនោះ គេយើងត្រូវដឹងខ្លះ អំពីជាតិរបស់ព្រះអង្គ គឺថាតាមរឿងរ៉ាវដែលបានស្រង់មកអំពីពង្សាវតាររបស់ព្រះអង្គ ឃើញថាជាបុត្រក្សត្រិយ៍ ១ ព្រះអង្គជាម្ចាស់នគរតូចមួយ នៅជាឯករាជ្យ ក្នុងចំណោមនគរតូច ៗ ឯទៀតជាច្រើន ដែលមាននៅក្នុងដែនឥណ្ឌាកាលជាន់នោះ ព្រះអង្គប្រសូតិនៅក្រុង កបិលវស្តុ ( កបិលវត្ថុ ) នៅលើព្រំប្រទល់ដែននេប៉ាល់សព្វថ្ងៃនេះ ប្រហែល ២.៦០០ ឆ្នាំហើយកាលក្នុងជាន់នោះ ស្រុកឥណ្ឌាមានតាំងជាត្រកូលផ្សេងៗជាច្រើន ត្រកូលដែលធំជាងគេនោះគឺ ត្រកូលព្រាហ្មណ៍ បន្ទាប់ត្រកូលនោះមកមានត្រកូលក្សត្រិយ៍ឬពួកសង្គ្រាម តពីនោះមកទៀតមានត្រកូលឈ្មួញ(ពាណិជ) ត្រកូលអ្នកធ្វើស្រែ (កុដុម្ពិក៍) ឬ សូទ្រ ឯព្រះពុទ្ធជាម្ចាស់ទ្រង់ព្រះនាមថា សិទ្ធត្ថ ឬ គោតម ជាត្រកូលនៃពួកសង្គ្រាម ព្រះអង្គសិក្សាសិល្បសាស្ត្រអំពីពួកគ្រូជាដើម ដែលជាពួកបង្កើតវិធីវេទដែលមានជាច្រើនក្នុងស្រុកឥណ្ឌាកាលជាន់នោះ វិធីដែលបានសិក្សាទាំងប៉ុន្មាននោះនាំឲ្យកើតឡើងជាមេវិជ្ជា ហើយមេវិជ្ជានោះ កាន់តែចម្រើនធំឡើង ៗ បណ្តាលឲ្យព្រះអង្គឃើញផ្លូវទៅខាងមុខទៀត វិជ្ជាចំណេះដែលសិក្សាទាំងប៉ុន្មាននេះ ព្រះអង្គពិចារណាឃើញសុទ្ធតែមិនពិត ហើយមិនពេញព្រះហឫទ័យព្រះអង្គសោះឡើយ ព្រះអង្គមានព្រះមហេសីតិក្មេងណាស់ ហើយលុះមានព្រះរាជបុត្រក៏បង្កើតជាសេចក្តីទៀយព្រួយក្នុងព្រះរាជហឫទ័យ ដូចជាមនុស្សលោកយើងក្មេង ៗ ឯទៀតដែលតែងព្រួយ

ផ្ទះច្បាះដែរ តែសេចក្ដីខ្សឹយព្រួយរបស់ព្រះអង្គជាប់នៅជានិច្ចវិប្បដិ: ឯគ្រឿងលំអដែលនៅជុំវិញព្រះអង្គនោះ ព្រះអង្គគង់មានត្រេកត្រអាល ទៅរកសោះ ព្រោះឃើញសុទ្ធតែជាលាមកអាក្រក់ទាំងអស់ ព្រះអង្គពិ-ចារណាឃើញថា ឯសេចក្ដីចំណាស់ស្រេចឃ្លានក្នុងមនុស្សលោកជាប់នេះ លើរូបបុគ្គលពាលសេចក្ដីត្រេកអរក្នុងជាតិកំណើតជាប់នៅលើសត្វ ដែលមានជីវិត (អង្គុត្តរនិកាយ) ។ ចុះបានទុក្ខនិងសើច បានទុក្ខនិងទោ-កាយ នៅក្នុងលោកនេះ បើខ្លួនអ្នកនៅក្នុងសេចក្ដីងងឹតងងល់ចុះហេតុអ្វីទៀត ក៏មិនរកប្រទីប (ធម្មបទ) ព្រះអង្គមានសេចក្ដីព្រួយក្នុងព្រះហឫទ័យ ហើយចង់រកផ្លូវសុខដែលជាទីនាំទៅកាន់ទីសម្រាកទុក្ខព្រួយ ទីក្សាន្ត ទីរលត់ទុក្ខ ទីរួចខ្លួន មិនចំពោះតែព្រះអង្គឯង ១ គឺចង់ឲ្យបានដល់សត្វ ទាំងអស់ដែលនៅក្នុងកងទុក្ខ ពោលគឺសង្សារវដ្តរៀបឯង ។

ក្នុងយប់ ១ នោះ សេចក្ដីគិតរបស់ព្រះអង្គ កាន់តែកើនចម្រើនឡើង ព្រះអង្គស្ដេចចេញពីព្រះបរមរាជវាំងលះបង់ចោលទាំង ភរិយា បុត្រា និង សម្បត្តិទាំងអស់ ហើយចេញទៅសិក្សាចំណេះជាថ្មីទៀតក្នុងសំណាក់ តាបស ដែលមានក្នុងពេលនោះ គឺមានតាបស អាឡារកាឡាម និង ឧទ្ទកការាមបុត្រ ជាដើម ប៉ុន្តែដែលសិក្សានៅនោះ គ្មានបានធម៌ អ្វី ១ ជាទីពេញព្រះហឫទ័យព្រះអង្គសោះ ហើយក៏ព្រះអង្គមកពិចារណា ថានឹងស្វែងរកតទៅនិងស្វះស្វែងតែខ្លួនព្រះអង្គឯងប្លែងមើល ព្រះអង្គខំចម្រើន មិនសម្រាក រិះប្រព្រឹត្តតាមវិធីរបស់តាបសទាំងនោះ រំងត់អាហារ សេចក្ដី

ទាំងប៉ុន្មានគ្មានបានផលអ្វីដល់ព្រះអង្គសោះឡើយ រឹតតែនាំឲ្យទៀយ ព្រួយលំបាកទៅវិញ ហើយក៏ដួលចុះទៅលើប្រថពី ដោយឃ្លានអាហារ និងដោយអស់កម្លាំងនៅមុខបញ្ចវគ្គិយដែលតាមព្រះអង្គ ៗ បើតាមធម្មតាសាសនាផ្សេង ៗ ឯទៀតនោះ គេសរសើរបស់គេថាជាវិសេសណាស់ទៅហើយ អ្នកណាដែលប្រព្រឹត្តឥរិយាបថក្រៅធម្មតាលើសហួសអំពីកម្លាំងដូច្នេះនេះ តែខាងឯព្រះពុទ្ធសាសនាវិញនោះ ឃើញប្លែកពីគេ គឺដៀលត្មះដល់កិរិយាដែលធ្វើបែបដូចល្បែងក្មេងដូច្នោះវិញ ឯសេចក្តីយល់នេះ ឃើញជាត្រូវល្អមែន ព្រះគោតម យល់ឃើញថា មិនមែនត្រូវធ្វើឲ្យទាស់ខុសនឹងបែបធម្មតា មិនមែនត្រូវធ្វើឲ្យថយកម្លាំងដល់ អាយតន តាមបែបតាបសនោះឡើយ ដែលនឹងបានសម្រេចនោះ គឺមានតែធ្វើ. ខ្លួនឲ្យបានស្រួលកុំមានរោគអ្វី ទើបអាចនឹងត្រិះរិះរកចិត្តដែលល្អនោះបាន ឃើញដូច្នេះហើយព្រះអង្គក៏សោយអាហារមានកម្លាំងឡើងវិញ ទើបតាំងចាប់ការនោះតទៅទៀត ប៉ុន្តែសោយតែទឹកដោះគោនំក្រៀបនិងផ្លែឈើ ៗ

ឯពួករបស់ព្រះអង្គ ទាំង ៥ នាក់ក៏គេចចោលព្រះអង្គទៅអស់ ហើយព្រះអង្គគង់បំពេញការនៅតែមួយព្រះអង្គឯងនៅក្រោមដើមពោធិ៍ធំ ១ ព្រះអង្គសម្លឹងពិចារណាមើលភពដែលសត្វមកចាប់បដិសន្ធិជុំវិញព្រះអង្គ ពិចារណាមើលសង្គ្រាមរបស់ជាតិនិងមរណៈយុទ្ធគ្នាហើយនឹងសេចក្តីត្អូញថ្ងូរអាឡោះអាល័យក្នុងរូបដែលរលាយទៅវិញ ៗ

ក្នុងយប់នោះ សេចក្តីងងឹតងងល់ក៏អន្តរធានបាត់ទៅ ព្រះអង្គបាន ឃើញនូវកំណើតព្រះអង្គឯង និងសត្វដទៃច្បាស់ទាំងអស់ក្នុងលោកនិង ឃើញនូវ ចុតិ នូវបដិសន្ធិរបស់សត្វទាំងអស់ព្រះអង្គត្រាស់ដឹងដ៏ប្រពៃនូវ ចតុរារិយសច្ច គឺសេចក្តីពិតទាំង ៤ ប្រការដែលមានឈ្មោះថា ទុក្ខ គឺសេចក្តីព្រួយ ១ សមុទយ គឺហេតុដែលជាទីបង្កើតឡើងនៃសេចក្តី ទុក្ខ ១ និរោធ គឺកិរិយាដែលរំលត់បង់នៃសេចក្តីទុក្ខ ១ និរោធ គាមិនីបដិបទា គឺផ្លូវដែលទៅកាន់ទីរំលត់ទុក្ខ ១ ៗ លុះបានរបស់ ទាំង ៤ ប្រការនេះហើយ ព្រះអង្គក៏បានដល់នូវព្រះនិព្វានក្នុងវេលានោះ ព្រះនាមរបស់ព្រះអង្គ ដែលហៅថា សិទ្ធត្ថគោតម នោះ ក៏ផុតត្រឹម នោះហើយ គឺបាននាមជាព្រះពុទ្ធថ្មី ១ ព្រះអង្គវិញ ៗ

សេចក្តីតយុទ្ធនោះមិនទាន់អស់នៅឡើយទេ គឺព្រះអង្គបានត្រាស់ ដឹងច្បាស់តែមួយព្រះអង្គឯង ហើយទ្រង់ពិចារណាថា តើទឹងត្រូវផ្សាយ វិជ្ជាដែលត្រាស់ដឹងនោះដល់ជនទាំងពួងឬទេ លុះទ្រង់ពិចារណាថា ធម៌ ដែលព្រះអង្គខំស្វែងរកនោះ ឃើញជាយល់បានកណាស់ ទើបព្រះអង្គញ្ញ ការសាយគំនិតមិនចង់សម្តែងធម៌ផ្សាយដល់ជនទាំងពួង ៗ ៗ ម្យ៉ាងទៀត បើយើងបានមើលគម្ពីរមហាវគ្គនោះ យើងនឹងឃើញសេចក្តីរៀបរាប់អំពី ចម្បាំងនិងសេចក្តីវេទនាទាំងនេះ ព្រះអង្គទ្រង់ពិចារណាថា "អញនឹង ផ្សាយធ្វើអ្វីរបស់ដែលអញរកឃើញនេះ មានតម្លៃណាស់ពេកណាស់ អញ យកសេចក្តីព្យាយាមជាអនេកទៅប្តូរយកមក" ហើយធម៌របស់អញនេះ

មិនអាចនឹងងាយយល់ដល់មនុស្សដែលមានសេចក្ដីលោភ និងសេចក្ដីប្រាថ្នាពេញខ្លួននោះឡើយ មនុស្សលោកទាំងឡាយមានសេចក្ដីប្រាថ្នាពេញខ្លួន មានសេចក្ដីងងឹតជុំវិញខ្លួន នោះមិនអាចនឹងចាប់សេចក្ដីពិតនេះបានឡើយ ព្រោះជាសេចក្ដីផ្ទុយទាស់ខុសនឹងសេចក្ដីដែលខ្លួនធ្លាប់ជឿ ធ្លាប់ចូលចិត្តខុស ជាធម៌លំបាកនឹងយល់ ហើយជ្រៅឆ្ងាយផង មិនអាចនឹងជ្រាបចូលទៅក្នុងប្រាជ្ញាគ្រោតគ្រាតនោះបានទេ ។

ខាងក្រោយនេះ សេចក្ដីករុណារបស់ព្រះអង្គទាញព្រះហឫទ័យគ្របបំបាត់មិនឲ្យស្ដាយសេចក្ដីដែលទំប្រឹងរបស់ព្រះអង្គ ក្នុងការស្វែងរកធម៌នេះ តាំងព្រះហឫទ័យថានឹងមិននៅស្ងៀមស្ងាត់ឡើយ ហើយទទួលព្រះអង្គនឹងផ្សាយនូវសេចក្ដីខ្ពង់ខ្ពស់នាទល្អដើម្បីល្បងនិងស្រោចស្រង់សត្វលោក ធម៌ដែលព្រះអង្គសម្ដែងជាដំបូងបំផុតនោះ នៅភ្លឺដល់សព្វថ្ងៃនេះ ធម៌នេះសម្ដែងនៅក្នុងព្រៃឈ្លូសឈ្មោះឥសិបតន នៅជិតស្រុកបែណារែស ( គឺពារាណសី ) ព្រៃនោះគេហៅថាម្រិគទាយវ័ន ។ នៅក្នុងវត្តអារាម អ្នកដែលកាន់ពុទ្ធសាសនាទាំងឡាយនោះ តែងតែឃើញមានគូររូបសត្វឈ្លូស ២ ឬ មោស ២ ជាតំណាងនៃព្រៃឈ្លូសនោះ ឬ តំណាងកន្លែងដែលសម្ដែងធម៌ទេសនានៅស្រុកបែណារេសនោះ ។ នៅទីនោះហើយ ដែលព្រះអង្គផ្សាយធម៌ អរិយ សច្ច ទាំង ៤ ជាដំបូង ដែលជាគោលចារឹកនៃព្រះពុទ្ធសាសនា ហើយជាធម៌ពិតមែនផង ធម៌អ្វីៗឯទៀតដែលបន្ថែមទៅលើ អរិយ សច្ច ទាំង៤នោះ សុទ្ធតែជាធម៌បំពេញ ជា

ធម៌បន្ទាប់បន្សំពី អរិយសច្ច ទាំង ៤ មក គម្ពីរមហាវគ្គមានអធិប្បាយ
អំពីធម៌ទេសនាដំបូងនេះ ជាធម៌ដែលព្រះអង្គសម្តែងដល់បញ្ចវគ្គិយ
ដែលរត់ចោលព្រះអង្គនៅវេលាកំពុងបំពេញភាវនា ហើយដែលព្រះអង្គ
បានរកឃើញឡើងវិញ ។

ព្រះអង្គទ្រង់សំដែងថា "មានបែប២ យ៉ាង ឬ មានផ្លូវប្រតិបត្តិ ២ យ៉ាង
ដែលអ្នកបួសត្រូវជៀសវាងចេញ បែប ១ នោះគឺប្រព្រឹត្តខ្លួនពេកមិនអាច
ញុំាង មគ្គ និង ផល ឲ្យកើតឡើងបាន គឺថា ជនឯណាដែលរស់នៅក្នុង
សេចក្តីត្រេកត្រអាលដោយកាមគុណ ៥ ប្រការនិងដោយភោគសម្បូរ
បែបនេះជាលាមកគ្រោតគ្រាត ហើយអាក្រក់ពេកណាស់ បែបមួយទៀត
គឺសេចក្តីប្រតិបត្តិតឹងពេកហួស មគ្គ និង ផល ជាការធ្វើខ្លួនឲ្យទៀប
ព្រួយឥតប្រយោជន៍ បែបនេះជាសេចក្តីលំបាកហើយអាក្រក់ផង តថាគត
បានជៀសចោលបែបទាំង ២ នេះ ហើយតថាគតរកឃើញផ្លូវកណ្តាល
ដែលនាំទៅកាន់ទីភ្លឺច្បាស់ ទីអរិយ ទីសុខ ទីចេះដឹង ទីត្រាស់ដឹងច្បាស់
ទីព្រះនិព្វាន ។

ផ្លូវល្អនោះហើយដែលចែកចេញជា ៨(អដ្ឋង្គិកមគ្គ)ហើយដែល
ឈ្មោះហៅថាសេចក្តីយល់ត្រូវ(សម្មាទិដ្ឋិ) គម្រិះប្រពៃ (សម្មាសង្ក-
ប្បោ) សម្តីពិត (សម្មាវាចា)កិរិយាធ្វើការងារល្អ(សម្មាកម្មន្តោ)
ចិញ្ចឹមជីវិតដ៏ប្រសើរ(សម្មាអាជីវោ) ព្យាយាមដ៏ប្រពៃ(សម្មាវាយា-
មោ) សេចក្តីរលឹកដ៏ប្រពៃ(សម្មាសតិ)តាំងចិត្តនឹងក្នុងអារម្មណ៍ដ៏ប្រពៃ

(សម្មាសមាធិ)ឯពាក្យដ៏ប្រពៃនេះប្រែពីពាក្យបាលីថាៈសម្មាកម្ម (ពាក្យនេះពិបាក នឹង ប្រែចេញជាភាសាបារាំងសែសឲ្យប្រាកដដូចគ្នាណាស់នឹងឲ្យន័យជាដូច្នេះនេះក៏បាន គឺធ្វើបំពេញត្រឹមត្រូវ សមនឹងច្បាប់ដែលចិញ្ចឹមជីវិតសេចក្ដីពិតនៃវត្ថុនីមួយ ១) ។

ឯសច្ចៈបួនសេចក្ដីពិតអំពីទុក្ខនោះ គឺជាតិ បុ ច ធ្វូ ៥ ប្រការក៏ជាទុក្ខ ជរា គឺសេចក្ដីគ្រាំគ្រារូបកាយក៏ជាទុក្ខ ព្យាធិ គឺសេចក្ដីឈឺចាប់ក៏ជាទុក្ខ មរណៈ គឺសេចក្ដីស្លាប់ក៏ជាទុក្ខប្រាសចាកអំពីវត្ថុដែលជាទីគាប់ចិត្តក៏ជាទុក្ខ មិនបានសម្រេចតាមសេចក្ដីប្រាថ្នាក៏ជាទុក្ខ ជាសរុបសេចក្ដីមកជាខន្ធទាំង ៥ ដែលកកើតឡើងជារូបនៃយើង ក៏សុទ្ធតែជាទុក្ខទាំងអស់ (ទុក្ខអរិយសច្ច) ។

ឯសច្ចៈ បួនសេចក្ដីពិតអំពីដើមកំណើតនៃទុក្ខ គឺតណ្ហាៈសេចក្ដីស្រេកសេចក្ដីចំណង់នេះហើយ ដែលជាហេតុជាដែននាំឲ្យកើតពីជាតិ១ ទៅជាតិ១ទៀត ជាមួយនឹងសេចក្ដីប្រាថ្នានិងចំណង់ ។ សេចក្ដីស្រេកឃ្លាននេះទំស្ទើរតែសេចក្ដីពេញចិត្តគឺជាសេចក្ដីប្រាថ្នារករបស់ពេញចិត្តរករបស់ដែលចង់គឺជាសេចក្ដីស្រេកឃ្លានក្នុងជាតិ ស្រេកឃ្លានក្នុង ភពសំណាងរបស់មនុស្សក្នុងជាតិនេះនិងជាតិខាងមុខ (ទុក្ខសមុទយអរិយសច្ច) ។

សច្ចៈ បួន សេចក្ដីពិត អំពីផ្លូវដែលនាំទៅកាន់ទីរំលត់ទុក្ខ គឺផ្លូវល្អដែលបែកចេញជាមែក ៨ នោះឯង ដែលមានឈ្មោះថា សម្មាទិដ្ឋិ សម្មា-

សង្កប្បោ សម្មាវាចា សម្មាកម្មន្តោ សម្មាអាជីវោ សម្មាវាយាមោ សម្មាសតិ សម្មាសមាធិ ទុក្ខនិរោធ-គាមិនីបដិបទា ត្រង់នេះហើយដែលជាដើមឫសនៃព្រះពុទ្ធសាសនារបស់សង្ឃ តពីវេលានោះទៅទល់នឹងថ្ងៃដែលបរិនិព្វាន គឺប្រហែលជា ៤០ ឆ្នាំនោះ ព្រះពុទ្ធព្រះអង្គទ្រង់ពុទ្ធដំណើរទៅ-មកក្នុងតំបន់ស្រុកឥណ្ឌាខាងជើងទ្រង់សម្តែងហើយអធិប្បាយពន្យល់អំពី អរិយសច្ច ទាំងនេះ ហើយឯពុទ្ធបរិស័ទក៏ចេះតែចំរើនឡើងជានិច្ចឥតមានដាច់ឡើយ ។

លុះព្រះជន្មបាន ៨០ ឆ្នាំ ព្រះអង្គជ្រាបថាទ្រង់ជិតនឹងអស់អាយុសង្ខារហើយ ថ្ងៃខាងក្រោយនោះព្រះអង្គបានសម្តែងនូវពុទ្ធភាសិតក្នុងមហាបរិ-និព្វានសូត្រ ព្រះអង្គទ្រង់អាពាធចាប់ជម្ងឺឡើងប្រហែលជាតមកពីអាហារមិនល្អ ដោយគេរៀបថ្វាយមិនពិនិត្យពិនិច្ឆ័យ ទ្រង់ព្រះចិន្តាថា នឹងយាងទៅកាន់កន្លែងដែលជាឧត្តមរបស់ព្រះអង្គជាមួយនឹងព្រះអានន្ទ លុះទៅតាមផ្លូវទៅ ព្រះអង្គនឿយព្រះកាយពន់ពេក បានដល់ទៅហើយក៏ឈប់សម្រាកព្រះអង្គនៅលើផ្ទាំងថ្ម ១ នៅទីនោះ ហើយសម្តែងនូវសេចក្តីទូន្មានជាខាងក្រោយបំផុតរបស់ព្រះអង្គ ( គឺជាព្រះពុទ្ធផ្ទំលើផ្ទាំងថ្មដែលទៀបនិងចូលបរិនិព្វាននោះ ហើយដែលតែងតែឃើញមានសាងជាព្រះបដិមាករតំណាងទុក ដែលយើងតែងតែឃើញមានក្នុងព្រះវិហារទាំងឡាយ ) ព្រះពុទ្ធរូបនោះ គេសាងជាព្រះអង្គផ្ទំផ្អាប់ព្រះកេសទៅលើព្រះហស្ថស្តាំដែលប្រត់ ។

ព្រះអង្គលួងលោមនូវពុទ្ធបរិស័ទទាំងអស់កុំឲ្យកើតទុក្ខ ហើយទ្រង់គិតជាថ្មីទៀតដល់សេចក្ដីកង្វល់របស់សត្វទាំងឡាយ ដែលខ្វល់ខ្វាយឲ្យរួចពីគ្រឿងជំពាក់ទាំងអស់របស់វិញ្ញាណ ឲ្យរួចពីគ្រឿងជំពាក់ចិត្តក្នុងសាសនា ។

អានន្ទ ប្រហែលជាអ្នកឯងគិតក្នុងចិត្តថាដូច្នេះ សេចក្ដីទូន្មានរបស់គ្រូយើងផុតអស់ហើយ យើងគ្មានគ្រូទៀតទេ មិនត្រូវគិតដូច្នេះឡើយ អានន្ទ សច្ច និង ធម៌អាថ៌ទាំងឡាយដែលតថាគតបានសម្ដែងដល់អ្នកទាំងអស់គ្នានោះ ហើយនឹងបានជាគ្រូប្រដៅនៃអ្នកទាំងឡាយ ឯក្រោយដែលតថាគតបរិនិព្វានទៅ ព្រះអង្គទ្រង់សម្ដែងបន្តិចអំពីរូបរបស់មនុស្សដែលតែងប្រែប្រួលរលាយទៅវិញ គឺថាគ្រាន់តែប្រជុំធាតុធម្មតាខ្លះ ៗ ឲ្យកើតជារូបបណ្ដោះអាសន្នប៉ុណ្ណោះ ហើយព្រះពុទ្ធជាម្ចាស់គង់បរិនិព្វានទៅ បើជាមនុស្សធម្មតាវិញហៅថាស្លាប់ ប៉ុន្តែឯចំណែកព្រះពុទ្ធវិញ ដោយព្រះអង្គត្រាស់ដឹងច្បាស់នូវធម្មជាតិទាំងអស់ នោះសេចក្ដីដែលប្រាសចាកអំពីរូបនោះ មិនមែនជាការធំមាំមួនអ្វីឡើយ ។

ខ្ញុំមិនអាចនឹងទាញយកលក្ខណៈក្នុងព្រះពុទ្ធសាសនាទាំងអស់មកនិយាយ ឲ្យឃើញថាយ៉ាងដូចម្ដេចខ្លះ ដែលជាគំនិតអឺរ៉ុបគេយល់នោះបានឡើយ គឺធ្វើដូច្នេះទៅ លុះតែជាច្រើនថ្ងៃច្រើនឆ្នាំ បើដូច្នេះខ្ញុំចូលចិត្តថាត្រូវយកតែគោលខ្លះមកនិយាយជូនអស់អ្នក អំពីសេចក្ដីដែលយើងពាល់គ្នាជាជាតិ នៅក្នុងបច្ឆិមប្រទេសគិតឃើញអំពីធម៌អាថ៌ដែលជាទីគាប់ចិត្ត

យើងជាងរបស់ឯទៀតដោយអាងដល់គម្ពីរផ្សេង ៗ ដែលខ្ញុំបានស្គាល់ ។

លក្ខណបញ្ញត្តិដ៏មួយក្នុងព្រះពុទ្ធសាសនាដែលមានក្នុងគម្ពីរដែលត្រឹមត្រូវជាងគេនោះ មានសេចក្ដីថា កុំឲ្យជឿហេតុអ្វីដែលជាហេតុផ្ទុយខុសនឹងសេចក្ដីត្រូវសេចក្ដីពិត កុំជឿថាពិតជាមែនមុនដែលបានពិចារណាមើល ជជែកដេញដោលហើយឃើញថាជាសេចក្ដីពិតមែនព្រមគ្នា ហើយត្រូវជៀសវាងអំពីសេចក្ដីដែលមិនបានពិគ្រោះពិភាក្សា នេះហើយជាការដ៏មួយក្នុងការសូត្ររៀនដែលយើងបានឃើញមានជាច្រើនកន្លែង ក្នុងសេចក្ដីអធិប្បាយនេះ សេចក្ដីពិតទាំងឡាយបានសម្ដែងទុកសម្រាប់មនុស្សទាំងអស់ ហើយត្រូវឲ្យមនុស្សនីមួយ ៗ ពិចារណាមើលសេចក្ដីទាំងនោះហើយជ្រើសរើសរក ឯកិច្ចដែលពិចារណារិះរកនោះ តាមដោយសតិបញ្ញានៃមនុស្សនីមួយ ៗ ដែលជួនកាលក៏រកមិនឃើញ ជួនកាលគ្រាន់តែជាសង្ស័យ ឬជួនកាលក៏រកមិនឃើញក្ដីយ៉ាងស្លុបស្លើង ព្រះសម្ពុទ្ធគ្រាន់តែបង្ហាញផ្លូវតែប៉ុណ្ណោះ ទុកឲ្យបរិស័ទខំយកចិត្តទុកដាក់ពិចារណារិះរកខ្លួនឯង គ្មានគោលចារឹកអ្វី គ្មានលក្ខណៈអ្វីសំដែងទុកឡើយ គឺមានតែសេចក្ដីណែនាំផ្លូវឲ្យរិះរកតាមក្រោយ ដើម្បីពិនិត្យពិចារណារក ហើយដោយអំណាចសេចក្ដីពិចារណានោះ ក៏នឹងជ្រើសរើសយកខ្លួនឯង បានតាមដោយសតិបញ្ញានៃជននីមួយ ៗ ។

មានអ្នកប្រាជ្ញក្នុងស្រុកឥណ្ឌាម្នាក់ ដែលស្ទាត់ខាងលទ្ធិព្រះពុទ្ធសាសនាបែបថ្មីឈ្មោះ ល គាន្ធីធរស្ស បានអធិប្បាយអំពីធម៌ដើមក្នុងព្រះ

ពុទ្ធសាសនា ថាអ្នកឯណាមួយកាន់យកទ្រូលធម៌ដែលគេធ្លាប់ជឿត ៗ មក មិនបានយកមករិះគិតមើល ឲ្យឃើញថាពិត ឬ មិនពិត អ្នកនោះឯងបានឈ្មោះថា កាន់យកទ្រូលធម៌ដោយភ័ន្តច្រឡំ អ្នកប្រាជ្ញនេះបានអធិប្បាយថា ឯវិធីដែលពិនិត្យពិចារណាមើលសេចក្ដីដែលពិតគួរជឿនីមួយ ៗ នោះ នឹងយកជាត្រឹមត្រូវបានលុះតែមូលមាត់គ្នាជាច្រើនទើបស្រេច បើត្រូវគ្នាតិចនឹងយកមកជាការពិតមិនបានឡើយ ព្រោះនឹងភ័ន្តច្រឡំទៅដោយហេតុផ្សេង ៗ បានមិនខាន បើមិនពិគ្រោះគ្នានោះនឹងពានទៅលើសេចក្ដីភ័ន្តច្រឡំជាថ្មីទៀត ព្រោះសេចក្ដីវែកញែកនោះឃ្លាតចេញពីផ្លូវល្បងមើលឲ្យស័ក្ដិសិទ្ធិមូលមាត់គ្នា ដែលបានហាត់រៀនសិក្សាវិជ្ជាដែលខុសគ ៗ មកតាំងពីដើមតាដីដូន នោះចិត្តក៏ត្រេកជឿទៅការវិជ្ជានោះក៏ឃើញថា សេចក្ដីនោះពិតដូច្នោះហើយ មិនមែនជាដូចម្ដេចក្រៅពីនោះទៅវិញទៀតឡើយ ហើយក៏កាន់យកទ្រូលធម៌នោះទៅ តែបានយកទៅពិនិត្យធ្វើល្បងឲ្យឃើញដូចម្ដេច ៗ នោះសោះ ។

មនុស្សយើងដែលមានតែសេចក្ដីណែនាំផ្លូវប៉ុណ្ណោះ ក៏តាំងរិះរកផ្លូវខ្លួនឯងឥតមានដំរិះសេចក្ដីជាមុនឡើយ ឯសេចក្ដីដែលរកឃើញនោះតាមតែខ្លួនដែលបានឃើញ នោះដូចម្ដេច ៗ ក្ដី ព្រះពុទ្ធមិនទូន្មានសិស្សរបស់ព្រះអង្គដោយស្មានទេ ។

អ្នកប្រាជ្ញដែលនេះនិយាយថា «ជាជ័យជំនះមួយរបស់ពុទ្ធសាសនាដែលបានវែកញែកសេចក្ដីត្រូវនិងសេចក្ដីច្បាស់ហើយ មិនមែនជាសេចក្ដី

ជឿដោយងងឹត ឬដោយឥតពិគ្រោះឡើយ ។

មានអ្នកប្រាជ្ញម្នាក់ទៀតសម្តែងថា ខាងចំណែកអ្នកកាន់ពុទ្ធសាសនា នោះមិនត្រូវធ្វើអ្វីមួយ ៗ ជាមុនដែលបានគិតទុកនោះឡើយ ព្រះសម្ពុទ្ធជាម្ចាស់បានទូន្មានថា មិនត្រូវជឿសោះ ឬមិនត្រូវទុកជាពិតនូវពាក្យដែលឮតៗ គ្នាមក ពាក្យដែលមិនបានពិគ្រោះពិភាក្សា ពាក្យដែលប្រហែលៗគ្នា ពាក្យដែលគេពោលប្រាប់ ឬ សេចក្តីអស្ចារ្យណាមួយ ព្រោះមានសូត្រពីបុរាណមួយឈ្មោះកាលាមសូត្រ លោកសម្តែងថា មិនត្រូវជឿសេចក្តីដែលឮតៗ គ្នាមកឡើយ ទុកជាសេចក្តីនោះធ្លាប់គោរពប្រតិបត្តិមកតាំងពីដើមរៀងរបអន្លងតមក ឬច្រើនស្រុកមកក្តីក៏កុំជឿឡើយ កុំឲ្យជឿសេចក្តីដែលចាស់ ៗ ព្រឹទ្ធាចារ្យធ្លាប់ជឿកន្លងមកហើយ ហើយឥតមានគោលចារឹកជាទីអាង កុំឲ្យជឿសេចក្តីដែលអ្នកបានរិះគិតស្មានថាព្រះឲ្យ អ្នកមិនត្រូវជឿសេចក្តីដែលគ្រូបានទូន្មានតែម្នាក់ឯងមិនឲ្យគេដឹងឮផង លុះតែបានពិនិត្យពិភាក្សាហើយ ទើបត្រូវជឿសេចក្តីដែលអ្នកបានល្បងមើលហើយ យល់ឃើញថាជាត្រឹមត្រូវផ្ទេះ ទើបត្រូវទឹងចិត្តខ្លួននិងចិត្តគេឯទៀត ។

សេចក្តីទាំងប៉ុន្មាននេះ ជាមានប្រយោជន៍ដល់គំនិតអ្នកដែលនៅក្នុងបច្ចិមប្រទេស ដែលត្រូវជាប់ទៅដោយវិជ្ជាផ្សេង ៗ ក្នុងលោកហើយ ដែលឥតបោកអំពីសេចក្តីជឿងងល់មិនច្បាស់ក្នុងការចេះដឹងជាដំបូង ដើម្បីធ្វើឲ្យប៉ះពាល់ដល់សេចក្តីពិតប្រាកដនៃការតាំងឡាយត្រូវតែបំពាក្យដែលថា "ត្រូវគិតជាមុនសិនដែលនឹងចាប់ធ្វើការអ្វីមួយ ៗ ,, គឺជាសេចក្តី

ត្រូវការដល់គំនិតយើង ដែលពិចារណាដោយបានធ្វើល្បងមើលរបស់យើងហើយ សេចក្តីរិះគិតរបស់យើងបំណេះវិជ្ជារបស់យើង សេចក្តីពិចារណាខាងក្នុងជួយគាំពារផង ក្នុងការដែលមិនជ្រះស្រឡះនោះ ប៉ុន្តែត្រូវរិះគិតខ្លួនយើងតាមដោយសតិបញ្ញារបស់យើងផង សេចក្តីនេះប្រកបនឹងពាក្យប៉ុន្មានម៉ាត់ប៉ុន្មានឃ្លាដូចមានខាងក្រោម គឺពាក្យដែលមានសម្តែងថា "ត្រូវជឿសម្តីដែលខ្លួនអ្នកបានធ្វើល្បងហើយ ឃើញពិត" លុះតែជម៉ឺងណាទីមួយមានកម្លាំងប្រាកដណាស់ មានសេចក្តីពិតប្រាកដណាស់ ទើបអាចនឹងបើកសេចក្តីឯកចិត្តទំនេរដូច្នេះបានអាចនឹងអនុញ្ញាតដល់សេចក្តីឯកចិត្តនៃមនុស្សនីមួយ ៗ ឲ្យពិចារណារកសេចក្តីដែលជឿថាពិតដូច្នេះបាន ត្រូវតែឲ្យគំនិតដែលពិចារណាជាឯកចិត្តរបស់មនុស្សម្នាក់ៗនោះ មានសេចក្តីពិតនៅក្នុងនោះជាប្រាកដ ព្រះពុទ្ធអង្គប្រាប់ច្បាស់ថា ក្នុងវេលាដែលបានពិនិត្យរិះគិតហើយនោះ គង់មានមនុស្សម្នាក់ ៗ នឹងកាន់យកតាមមិនខាន សេចក្តីស្មានជ្រៀងដែលបើកឲ្យគេរបស់ពិតនោះមានគេទំប្លែកជាច្រើន អំពីការបោសក្តិតសក្តិទក់ហែងបង្ខំឲ្យកាន់យកសេចក្តីពិតដែលជាគោលតម្រារបស់សាសនាផ្សេង ៗ ឯទៀតគោលនោះដូនតាលជាសេចក្តីខាងសុខ្ទុយគ្នានឹងផ្លូវល្អ គឺបើជនឯណាបេះដឹងហើយចង់រកសេចក្តីត្រូវខ្លួនឯង គេងរែងគំនិតចេញជា ២ យ៉ាង មួយយ៉ាងគឺសិក្សាវិជ្ជាសម្រាប់លោក មួយយ៉ាងទៀតគឺសិក្សាលទ្ធិសាសនា ហើយគឺនឹងឃើញថា សេចក្តីទាំង ២ នេះ លះបង់ចេញពីគ្នាមិនបាន ដំណែក

ព្រះពុទ្ធសាសនាវិញនោះមានគោលតែ ១ ហើយគោលនេះមិនមែនជាមានសេចក្តីខ្ពង់ខ្ពស់បន្តិចបន្តួចឡើយ ។

ហេតុដូច្នេះទើបឃើញថា នៅវេលាដែលចាប់សិក្សាចំណេះជាដំបូងនោះ អ្នកកាន់ពុទ្ធសាសនា បានសម្រេចដោយកម្លាំងវិជ្ជារបស់ខ្លួនមួយៗ ហើយយើងត្រូវតែសារមកនិយាយត្រង់កន្លែងនេះទៀត ដើម្បីកំចាត់បង់នូវគំនិតខុសដែលបានផ្សាយទៅក្នុងប្រទេសអឺរ៉ុប អំពីពាក្យដែលថាពុទ្ធសាសនាគ្មានបរិក គ្មានលក្ខណៈ មានមនុស្សជាច្រើន នៅក្នុងបច្ចិមប្រទេសដែលជ្រួតជ្រាបទៅដោយពាក្យតៗគ្នាមិនបានពិគ្រោះនោះនិយាយទាស់ថា "អ្នកកាន់ពុទ្ធសាសនាកត្រូវឃើញខ្លួនឯងនោះជាការល្អណាស់ទៅហើយ ប៉ុន្តែអ្នកឯណាដែលនាំផ្លូវនោះ គឺជារបស់គ្រូដែលបានណែនាំប្រាប់ដល់សិស្ស អំពីរបៀបដែលអាចនឹងបានដល់សេចក្តីពិត គេគមានប្រាប់ថាផ្លូវម្តេចឡើយ គេរៀនបែបដែលរកសេចក្តីពិត ដើម្បីឃើញការពិត មិនមែនរៀនលើរបស់ពិតនោះឡើយ ហើយគេនឹងបានឃើញជាប្រាកដ ប្រសិនបើយកចិត្តទុកដាក់ពិចារណារែក គេនឹងយល់ថាពុទ្ធសាសនានេះ ជាផ្លូវសម្រាប់ប្រាថ្នានិងសេចក្តីដឹងពិត មិនមែនដោយសេចក្តីតក់ស្លុតលេលលេឡើយ ឥតមានជាដែកគូឡើយ អំពើបែបនេះនោះជាសេចក្តីទុយគ្នា និងទម្លាប់យើងដែលធ្លាប់ឃើញក្នុងសាសនារបស់ខ្លួនក្នុងបច្ចិមប្រទេសក្តី ដោយបែបនេះនឹងមានប្រយោជន៍ឡើងលុះតែបានពិចារណារកហើយជ្រើសរើស សេចក្តីដែលត្រូវនោះ ហើយអ្នកដែល

បានពិចារណានេះ មិនដែលដកក្បាលចិត្តមកពើកយវិញឡើយ ដោយ សុទ្ធតែជាចេតនារបស់ខ្លួនស្ទើរតែនឹងរកឃើញខ្លួនឯងទាំងអស់ ដែលខ្លួនជឿនេះ ៗ

ប៉ុន្តែដោយសេចក្ដីមិនខ្វល់ចិត្តចង់បញ្ជាក់ មិនចូលចិត្តចង់និយាយឲ្យច្បាស់ ដោយគ្រាន់ហាក់ដូចជាចង់តម្រូវអ្វីមួយ ៗ ជាត្រឹមត្រូវពេក ដោយគ្រាន់តែទៅលើគោលការណ៍ខុស នោះក៏ឃើញថា ធម៌របស់ព្រះពុទ្ធនោះមិនត្រឹមត្រូវស្មើនឹងគម្ពីរដទៃផ្សេងៗ ឯទៀត ដែលមានអក្ខណៈបញ្ជាក់ជាច្រើន ហើយឯសេចក្ដីត្រឹមត្រូវក្នុងគំនិតរបស់ពុទ្ធបរិស័ទនោះ ជាការមានប្រយោជន៍ ដើម្បីពិនិត្យពិចារណាសេចក្ដី ដែលគេដាក់មកឲ្យគិតសេចក្ដីនេះ មានមនុស្សចំនួនច្រើន ដោយខ្លួនចូលចិត្តរកគំនិត ដែលគេបានគិតទុកជាមុនស្រេច ចំពោះប្រយោជន៍ក្នុងការដែលធ្វើដោយប្រាជ្ញានោះនឹងបានជាភស្តុតាងមួយ មនុស្សយើងត្រូវរៀនឲ្យស្គាល់ដោយខ្លួនឯង ឲ្យស្គាល់កម្លាំងរបស់ខ្លួន តាំងនៅខ្លួនមួយដូចនេះទៀតថា ឯការនេះបានសម្រួលទៅដោយលក្ខណៈរបស់អ្នកតែងសៀវភៅក្នុងពុទ្ធសាសនា ដែលជាអ្នកកាន់ពុទ្ធសាសនាពិតៗ បានតែងទុកតាំងពីច្រើនឆ្នាំដែលកន្លងមកហើយ ហើយនិយាយពីភាគយើងជាជាតិនៅក្នុងបច្ចិមប្រទេសនោះ ក៏មានសំណាងណាស់ដែរ ដោយបានជួយប្រែគំនិតយោបល់ហិណ្ឌូទៅជាយោបល់បច្ចិមប្រទេសវិញ យើងបានឃើញថាឯសេចក្ដីមួយ

ជាដំបូងដែលព្រះពុទ្ធជាម្ចាស់ បានសម្តែងទុកឲ្យពុទ្ធបរិស័ទពិចារណានោះ ជាដូច្នេះ ក្នុងលោកនេះអ្វីក៏សុទ្ធតែជាទុក្ខទាំងអស់ គឺ "ជាតិក៏ជាទុក្ខ ព្យាធិក៏ជាទុក្ខ សេចក្តីប្រាសព្រាត់ក៏ជាទុក្ខ" ប៉ុន្តែអ្នកឯណាដែលទទួលទុក្ខទាំងនោះ អ្នកដែលទទួលទុក្ខនោះគឺដែលមនុស្សយើងហៅថាខ្លួនប្រាណនោះឯង (អាត្មន) ឯសេចក្តីពិតទីមួយនោះ បានសេចក្តីថា បើនឹងចង់ឲ្យរួចពីទុក្ខនោះត្រូវតែឲ្យមានចំណេះ គឺសេចក្តីចេះដឹង លុះវេលាដែលបានពិចារណាហើយនោះ បានស្គាល់ថាខ្លួនប្រាណ ដែលជាប់ជិតនឹងយើងយ៉ាងមាំនោះ ឥតមានរូបដោយពិតប្រាកដឡើយ សេចក្តីល្ងង់វង្វេងមិនដឹងខុសត្រូវមិនដឹងសេចក្តីពិតនោះឯង ដែលធ្វើឲ្យមនុស្សបានទុក្ខបានព្រួយលំបាក ដោយរបស់អ្វីដែលគ្មានរូបជាពិតប្រាកដនោះមិនចេះកើតទុក្ខឡើយ ត្រង់នេះហើយជាគំនិតដែលថាមិនមែនជាខ្លួនប្រាណ ដែលថាខ្លួនប្រាណឥតរូប ដែលខ្ញុំនឹងអធិប្បាយឲ្យលុះដល់ជាតិក្នុងបច្ចិមប្រទេសយល់បាន ។

គំនិតនេះ គឺព្រះពុទ្ធជាម្ចាស់បានសម្តែងក្នុងសេចក្តីដែលព្រះអង្គហៅថាសេចក្តីលក្ខណ៍ទាំង ៣ យ៉ាង (ត្រៃលក្ខណ៍) គឺ "រូបទាំងអស់ដែលកើតឡើងសុទ្ធតែមិនទៀង សុទ្ធតែជាទុក្ខ សុទ្ធតែគ្មានខ្លឹមសារ" ដើម្បីនឹងយល់ពាក្យដែលព្រះពុទ្ធភាសិតទុកនោះ ត្រូវតែរិះគិតសាទៅរកគំនិតដែលគេធ្លាប់គិតក្នុងស្រុកឥណ្ឌា ក្នុងកាលមុនព្រះពុទ្ធនោះ អំពីសេចក្តី

ដែលកើតឡើងជារូបមានជីវិត កើតឡើងជាទឹកដី និងជាលោកទាំងពួង ពួកព្រាហ្មណ៍ដែលកាន់ក្បួនវេទនៅក្នុងស្រុកឥណ្ឌានោះ អធិប្បាយថាអ្វីៗដែលមកប៉ះពាល់ដល់ខ្លួនយើងដូចជាពន្លឺ កម្លាំងជីវិត ធាតុគ្រោតគ្រាតនោះ គឺជារបស់ផ្សេងៗ ដែលកើតឡើងពីរបស់ជាមួយគ្នា គឺជាធាតុមួយដែលរស់នៅដោយអំណាចបុទ្ធិអ្វីៗយ៉ាងជាន់ខ្ពស់ ចំណែកបុទ្ធិជាន់ខ្ពស់ដែលមាននៅក្នុងសត្វនីមួយៗ នៅក្នុងរបស់នីមួយៗ នោះបានជាព្រលឹងនៃសត្វនោះដែលទ្រទ្រង់នូវអត្តភាព ព្រះសម្ពុទ្ធទ្រង់យកតាមគំនិតទាំងនេះដែរ តែមកប្តូរគ្នាថាបុទ្ធិជាន់ខ្ពស់នោះឥតវិញ្ញាណឡើយ ឯព្រះដែលមានបុទ្ធិបំផុត ចេះបំផុតរបស់ពួកព្រាហ្មណ៍នោះ គឺជាជាតិជាន់ខ្ពស់ដែលបានធ្វើការខាងក្នុង ហើយបានចេះដឹងជ្រៅជ្រះនូវលោកិយធម៌ នូវធម្មជាតិដែលទ្រទ្រង់លោក ប៉ុន្តែជាតិទាំងនេះ ក៏ដូចជារូបឯទៀតដូច្នោះដែរ និងនៅក្នុងធម៌មិនទៀងដូចគ្នា ទៅពីពេលដែលធ្វើការទៅបានដល់ពេលដែលឈប់សម្រាក ដូច្នេះឃើញថាទៅពីពេលកបដិសន្ធិទៅបានដល់ទៅដល់ពេលដែលមរណៈឈាយទៅវិញ ទោះជា សង្ខារ លោកនេះក្តី ទោះជាជាតិមានជីវិតក្តី ទោះជាជាតិដែលខ្ពស់ជាងមនុស្សយើងក្តី ក៏សឹងតែវិនាសទាំងអស់ ។

កាលដឹងដូច្នេះហើយ ក៏ឃើញថារូបមនុស្សយើង គ្រាន់តែជាទីប្រជុំនៃធាតុផ្សេងៗ ប៉ុណ្ណោះ ដែលនឹងរស់នៅបានក៏ដោយសារអំណាចធាតុ

ដែលប្រជុំគ្នាតាំងនៅ ដែលនឹងបាត់សូន្យទៅវិញក៏ព្រោះតែធាតុផ្សេងៗ នោះប្រាសចាកចេញពីគ្នា ឯម្ចាស់នៃធាតុគឺវិញ្ញាណនោះ នឹងនៅបាន តែក្នុងពេលដែលមានធាតុប្រជុំគ្នា យើងនឹងឃើញសេចក្ដីពន្យល់នៃគំ-និតនេះនៅក្នុងគម្ពីរមួយ ដែលប្រែ ៖ អ៊ីប៉ុមានជាភាសាបាលី ហើយ ដែលមានសុទ្ធតែជាសេចក្ដីចោទឆ្លើយរបស់ស្ដេចមិលិន្ទនិងពុទ្ធបរិស័ទមួយ អង្គនាមថា នាគសេន គម្ពីរនេះមានសារបានថា "សេចក្ដីចោទរបស់ មិលិន្ទ មិលិន្ទបញ្ហា ឯកិរិយាសោយអារម្មណ៍ (វេទនា) សេចក្ដី សម្គាល់ (សញ្ញា) វិធីតាក់តែង (សង្ខារ) ការត្រិះរិះ (វិញ្ញាណ) ទាំង ទាំងអស់នេះ សុទ្ធតែជាធម្មជាតិ មកជ្រកកោនបណ្ដោះអាសន្នប៉ុណ្ណោះ ហើយបើសុទ្ធតែធម្មជាតិប៉ុណ្ណោះទេ មកផ្សំគ្នាឡើងបានជារូបដូច្នេះ នោះ គេត្រូវសម្គាល់ថារូបនោះមានកិរិយាមិនទៀង ហើយជនឯណាដែលបាន ពិចារណាសេចក្ដីទាំងនេះ បានស្គាល់ពិត បានកំណត់ច្បាស់អំពីហេតុ មិនទៀងនេះ ជននោះឯងបានដល់នូវសេចក្ដី "ចេះដឹង" ក្នុងពេលជា មួយនោះ គឺថាបានឃើញនូវរបស់ឥតប្រយោជន៍ដែលជាប់ទៅនឹងរូប និងវេទនា សញ្ញា សង្ខារ និង វិញ្ញាណ កាលណារូបនឿយ ណាយនឹងរបស់ទាំងនេះហើយ ឯសេចក្ដីប្រាថ្នានោះក៏ប្រាសចាកចេញ លុះសេចក្ដីប្រាថ្នាប្រាសចេញហើយ ហើយអ្នកនោះក៏ចូលផុតពីសំសារ-ទុក្ខ ហើយបានដល់នូវសេចក្ដីឯកចិត្ត សប្បាយនឹងសេចក្ដីរំងាប់របស់

ខ្លួន ព្រោះយល់ច្បាស់ថា សេចក្តីលែកើតលែស្លាប់នោះ វិនាសអស់ ហើយខ្លួនជននោះក៏មិនត្រឡប់មកកើតក្នុងលោកនេះវិញឡើយ" ។

ត្រង់នេះ យើងឃើញនូវសេចក្តីដែលកើតតៗគ្នាមក ដែលព្រះពុទ្ធសម្តែងថា សេចក្តីដែលកកើតឡើងជារូបថ្មីនោះ មានធាតុប្រជុំជាថ្មីបណ្តោះអាសន្នទៀតដំនុំធាតុទាំងនេះមានធាតុផ្សេងៗ ដែលជាធាតុជាប់នឹងរូបសត្វកាលជាតិមុនចូលលាយគ្នាទៀត ឯគំនិតដែលគិតឃើញថាមានកើតត ៗ គ្នាមិនដាច់នោះ មិនមែនមានតែក្នុងពុទ្ធសម័យប៉ុណ្ណោះទេ គឺគេបានឃើញគំនិតនេះក្នុងគម្ពីរផ្សេង ១ ក្នុងស្រុកឥណ្ឌាតាំងពីមុនព្រះពុទ្ធយូរណាស់មកហើយ ហើយគំនិតនេះទៀតក៏មិនមានតែក្នុងប្រទេសឥណ្ឌាប៉ុណ្ណោះ គឺគេបានប្រទះឃើញក្នុងសៀវភៅផ្សេង ១ ជាអក្សរក្រិកនិងឡាតាំងផង សព្វថ្ងៃនេះមានជាតិនៅក្នុងបច្ចិមប្រទេសជាច្រើន ដែលគេជឿថាដូច្នេះ មានស្រុកអង់គ្លេសជាដើម គឺមកពីគំនិត ១ ដែលនាំឲ្យយល់សេចក្តីដែលមិនស្មើគ្នាក្នុងលោក 'មានសេចក្តីឈឺថ្កាត់ព្រួយលំបាក ទុក្ខទោមនស្សដែលបង្កើតឡើងដល់មនុស្ស សេចក្តីត្រង់នេះនាំឲ្យយើងគិតឃើញដល់ពាក្យ ១ ដែលចំណែកពុទ្ធសាសនាហៅថា "កម្ម" ។

យើងបានដឹងជាប្រាកដថា កម្មនោះ គ្មានជាសេចក្តីដាច់ខាតតែម្នាក់ឯងឡើយ ពិតមែនតែជាតិនៅក្នុងបច្ចិមប្រទេសប្រើពាក្យនេះជាញឹកញាយ ត្រូវនិយាយឲ្យចំថាកម្មនិងវិបាក នោះ គឺជា ហេតុ និង ផល តាមពាក្យបារាំង

សែសគេប្រែថា "ជាបច្ច័យនៃហេតុនិងផល" គេនឹងថា ជារង្វាន់ដែលជៀសមិនផុតក៏បាន គម្ពីរមហាវគ្គដែលយើងបាននិយាយមកហើយមានសេសម្ដែងថា គឺធម៌នេះហើយធ្វើឲ្យព្រះពុទ្ធភ្ញាក់នៅវេលាដែលព្រះអង្គកំពុងយាងទំផ្សាយធម៌ក្នុងស្រុកឥណ្ឌា "គឺជារបស់ ១ ដែលលំបាកនឹងយល់ណាស់ អំពីបច្ច័យនៃហេតុនិងផល អំពីសេចក្ដីទាក់ទងគ្នានៃហេតុនិងផល" ឯគំនិតដែលថាត្រឡប់កើតវិញគំនិតដែលថាមានកម្មនោះក៏មានមុនព្រះពុទ្ធ ដែលតាំងពីវេលាដែលស្រុកឥណ្ឌាចាប់រិះគិតអំពីក្បួនខ្នាត គឺតាំងពីវេលាដែលកំពុងរៀនវេទ ហើយដែលក្បួនទាំងឡាយនោះបានមកដល់យើងសព្វថ្ងៃ ហើយបានប្រែចេញជាភាសាបារាំងសែសនោះមានរៀនធម៌នេះគ្រប់កេងរៀន ឯពាក្យនេះគេនឹងប្រែជាពាក្យបារាំងសែសថា "អំពើ" ក៏បាន គឺថាបើគ្មានផលនោះមិនមានហេតុឡើយ ហើយបើគ្មានហេតុក៏ឥតផលដែរ អំពើអ្វីៗ ទោះធ្វើដោយកាយក្ដី ដោយចិត្តក្ដីនោះសុទ្ធតែជាប់មកអំពីអំពើនៃកាយនិងចិត្តពីមុនមក ហើយអំពើដែលធ្វើនោះក៏ជាប់ទៅនឹងអំពើដែលធ្វើដោយកាយនិងដោយចិត្តទៅមុខតទៅទៀតក្នុង ៗ ក្បួនយើងខាងស្រុកបច្ចិមប្រទេសដែលជាក្បួនកើតក្រោយក្បួនហិណ្ឌូនោះគំនិតនេះឃើញថាថ្មីណាស់ ហើយសព្វថ្ងៃនេះគំនិតនេះកើតឡើងវិញជាថ្មីទៀតក្នុងវិធីដែលអ្នកប្រាជ្ញស្រុកយើងបានតែងអំពីផលកម្ម ដោយកាយឬដោយចិត្តរបស់មនុស្សលោក ៗ

បើគំនិតដែលជឿថាកម្មនោះកើតមុនព្រះពុទ្ធ នោះត្រូវជឿថាគំនិតនេះហើយជាគោលចារ៉ែកនៃធម៌របស់ព្រះពុទ្ធ ឯសច្ចៈឬសេចក្តីពិតទាំង ៤ និងផ្លូវដែលចែកជាមែក ៨ នោះមានគោលតែ ១ គឺធ្វើមនុស្សឲ្យរួចចេញពីកម្មមិនមែនធ្វើឲ្យសូន្យកម្មដែលកន្លងមកហើយនោះទេ ប៉ុន្តែនឹងធ្វើកុំឲ្យលុះទៅតាមកម្មជាថ្មីទៀតទៅខាងមុខបាន ដូច្នេះហើយមនុស្សក៏រួចពីសេចក្តីវិលកើតឡើងវិញផុតចាកអំពីទុក្ខទាំងពួងអស់ ។

ឯកម្មនេះមិនមែនជាអំណោយរង្វាន់ រួចទំលាក់មកដូចមាននិយាយក្នុងសាសនាយើង នៅក្នុងបច្ចិមប្រទេសនេះឡើយ គឺជាធម្មជាតិមួយដែលគេអាចនឹងដាក់ថ្នាំកែបាន ដោយកិច្ចជាផ្លូវធម៌ដែរ ឯកិច្ចជាផ្លូវធម៌នេះគឺសេចក្តីចេះដឹងនូវសច្ចៈទាំង ៤ និងសេចក្តីកាន់យកនូវផ្លូវដែលចែកជាមែក ៨ ជួនកាលក៏ជាការលំបាកនឹងដឹងថាសេចក្តីឈឺចាប់ ដែលមានដល់មនុស្ស ក្នុងជាតិមួយដែលនៅលើដីនោះជាមកពីទីណា ប៉ុន្តែសេចក្តីឈឺចាប់ទាំងនេះ គឺជាប់មកពីហេតុយ៉ាងឆ្ងាយ ហើយជាច្រើនតមកណាស់ហើយ តែបើទុកជាដូច្នេះទោះជាសេចក្តីលំបាក នឹងដឹងអំពើហេតុនេះក្តី ក៏ពួកអ្នកកាន់ពុទ្ធសាសនាហាក់ដូចជាមិនសង្ស័យអ្វីអំពីកម្មនេះ ក្នុងសេចក្តីចោទរបស់ស្តេច មិលិន្ទ នោះ ក្រុងមិលិន្ទ សួរទៅព្រះ នាគសេនថា ៖ ចុះហេតុអ្វីបានជាមនុស្សយើងមិនដូចគ្នាទាំងអស់ មនុស្សខ្លះក៏មានអាយុខ្លី ខ្លះមានអាយុវែង ខ្លះជាមនុស្សមានជម្ងឺរទុក ហើយ

ខ្លះបានសេចក្តីសុខសប្បាយធូនបរិបូណ៌ ខ្លះអាក្រក់ ខ្លះល្អ ខ្លះមានឬទ្ធិអំណាច ខ្លះក្រខ្សត់ ខ្លះមាន ខ្លះកើតក្នុងត្រកូលទាបថោក ហើយខ្លះកើតក្នុងត្រកូលខ្ពង់ខ្ពស់ ខ្លះភ្លីភ្លើល្ងង់ ខ្លះមានប្រាជ្ញា ។

ព្រះនាគសេនសួរតបវិញថា ហេតុអ្វីបានជាឈើទាំងឡាយមិនដូចគ្នា ឈើខ្លះក៏មានជាតិជូរខ្លះមានជាតិប្រៃ ឬ ល្វីង ឬ ចត់ ឬ ប្រហាក់ឬផ្អែម ។ ស្តេចឆ្លើយទៅវិញថាខ្ញុំយល់ឃើញថា សេចក្តីផ្សេងគ្នានេះ មកអំពីពូជខុសគ្នា ។

ព្រះនាគសេនឆ្លើយតបវិញថា មនុស្សយើងទាំងអស់គ្នាបានជាប្លែកគ្នាមិនព្រោះអ្វី គឺព្រោះតែមានពូជ គឺកុសលកម្ម និង អកុសលកម្មខុសគ្នានោះឯង ក៏ធម្មតាមនុស្សទាំងឡាយសុទ្ធតែមានកម្មគឺអំពើដែលធ្វើអាក្រក់ និង ល្អនោះឯងជារបស់ខ្លួនឬជាខ្លួនប្រាណទាំងអស់ (កម្មស្សកោ) មានកម្មជាកេរ្តិ៍អាករឬមត៌កជារង្វាន់ ត្រូវទទួលយកខានមិនបាន គឺថាអ្នកណាដែលធ្វើនូវកុសលកម្មឬអកុសលកម្មក្នុងពេលមុនហើយ ដល់មកខាងក្រោយត្រូវតែទទួលកាន់យកនូវផលនៃកុសល ឬអកុសលនោះខានមិនបាន ព្រោះថាអ្នកណាធ្វើអ្វីត្រូវតែបានរបស់នោះជាយពិត (កម្មទាយាទោ) មនុស្សទាំងអស់មានកម្មជាផៅពង្សឬជាមានកម្មជាញាតិសន្តានជាមិត្រសម្លាញ់ជាគូកនជាបងប្អូន (កម្មពន្ធុ) មនុស្សទាំងអស់មានកម្មជាទីរឭកនឹកគេឬថាមានកម្មជាទីពឹងផ្អែក មានកម្មជាទី

សំណាក់អាស្រ័យ ឬថាមានកម្មជាគ្រូបាធ្យាយជាទាយទៅហើយ (កម្ម
បដិសរណា) អ្នកទាំងឡាយឯណាធ្វើនូវអំពើកម្មឯណាជាកម្មល្អឬ
ជាកម្មអាក្រក់ អ្នកទាំងឡាយនោះត្រូវទទួលយកនូវផលនៃកម្មនោះ ឬ
ជាត្រូវទទួលយកនូវសម្បាច់ផ្ទាន់ កេរ្តិ៍អាករមត៌កនៃកម្មនោះដោយពិត
(យំ កម្មំ ករិស្សាមិ កល្យាណំ វា បាបកំ វា តស្សទា-
យាទា ភវិស្សាមិ) គឺកម្មនោះហើយដែលជាអ្នកតម្រូវថ្នាក់ឱ្យមនុស្ស
យើងគ្រប់ថ្នាក់មិនខាន ។

មានគម្ពីរក្នុងពុទ្ធសាសនាមួយទៀតឈ្មោះថា អង្គុត្តរនិកាយ
សម្តែងថា អំពើរបស់ខ្ញុំជាកុសលខ្ញុំ អំពើរបស់ខ្ញុំជាមត៌កជាកេរ្តិ៍អាករ
របស់ខ្ញុំ អំពើខ្ញុំជាទីដែលខ្ញុំកើត អំពើខ្ញុំជាពូជពង្សជាគោត្រត្រកូលរបស់ខ្ញុំ
អំពើខ្ញុំជាទីជ្រកពឹងរបស់ខ្ញុំ ។

ប៉ុន្តែដោយវិជ្ជាត្រូវល្អដែលឥតមានកន្តច្រៃ អ្នកកាន់ពុទ្ធសាសនា
ក៏ឃើញច្បាស់នូវកម្មនេះដោយមិនជឿថារូបមានកិរិយាទៀងទឹងមិនជឿថា
មានអត្តានោះ ដែលពួកព្រាហ្មណ៍ហៅថា អាត្មន ដែលជាលក្ខណៈជាន់
ខ្ពស់បែកមកខុសពីគ្នាទាំងអស់ ត្រង់នេះ យើងនឹងឃើញមាននៅក្នុង
សេចក្តីពោលរបស់ស្តេច មិលិន្ទ ទៀត ដែលជាទីនាំឱ្យពិភាល់ក្នុងចិត្ត ។

ស្តេចមិលិន្ទសួរទៅនាគសេនថា " តើមនុស្សដែលស្លាប់ទៅ
អ្វីដែលមកកើតវិញ" ។

ឆ្លើយថាតើនាមរូបនោះមកកើតឡើងវិញ (នាមរូបនេះ ប្រែទៅជាពាក្យបាលីថា ធម្មជាតិដែលកើតឡើងដោយហេតុផ្សេង ៗ ) ចុះនាមរូបឯណា នាមរូបដដែលនេះ ឬនាមរូបដទៃដែលមកកើតវិញនោះ ឆ្លើយថាមិនមែននាមរូបដដែលនេះទេ តែថាគឺជាកិច្ចការទាំងឡាយល្អ ឬ អាក្រក់ដែលនាមរូបនោះបានធ្វើហើយ ផលនៃកិច្ចការទាំងឡាយនេះឯងក៏ញុំាងនាមរូបថ្មីទៀតឲ្យកើតឡើង ។

គឺថានាមនិងរូបរបស់មនុស្ស ដែលធ្វើបាបឬបុណ្យក្នុងជាតិនេះផលបាប ឬ ផលបុណ្យនោះហើយ ដែលជាអ្នកញុំាងនាមនិងរូបថ្មីទៀត ឲ្យកើតឡើងក្នុងភពខាងមុខ ព្រះនាគសេនសម្តែងបញ្ចប់តទៅទៀតថាដូច្នេះ ៖

"បពិត្រមហារាជ ពិតមែនតែអំពើកិច្ចការទាំងឡាយល្អ ឬ អាក្រក់ជារបស់នាមរូបនេះ ធ្វើហើយញុំាងនាមរូបថ្មីឲ្យកើតឡើងទៀត ឯនាមរូបថ្មីនេះ មិនអាចនឹងរួចផុតអំពីអំពើកិច្ចការ ដែលខ្លួនបានធ្វើអំពីមុន នោះឡើយ ។

នែមហារាជ សេចក្តីនេះឧបមាដូចជាមនុស្សម្នាក់ឡើងទៅលើថ្នាក់លើបំផុតនៃផ្ទះខ្លួន ហើយបរិភោគអាហារនៅទីនោះ ឯចង្កៀងដែលព្យួរខ្ពស់ពេក ក៏ឆាបឆេះស្បូវដម្បូលផ្ទះទាំងមូលហើយក៏ឆេះអស់ទៅ ភ្លើងនោះរាលពីផ្ទះមួយទៅផ្ទះឯទៀត ៗ ហើយផ្ទះក្នុងភូមិទាំងមូលក៏ឆេះខ្ទេច

អស់ទៅ អ្នកម្ចាស់ផ្ទះទាំងនោះក៏ទៅប្រកាន់មនុស្សនោះ ហើយគេនិយាយថា "អ្នកឯងបានដុតភូមិយើងវិនាសអស់" "មនុស្សនោះឆ្លើយតបវិញថា" ខ្ញុំមិនបានដុតផ្ទះភូមិអ្នកឯងទេ អណ្តាតភ្លើងចង្កៀងដែលចំភ្លឺខ្ញុំកាលខ្ញុំបរិភោគអាហារនោះជាភ្លើងដោយខ្លួន ហើយភ្លើងដែលឆេះភូមិអ្នកនោះជាភ្លើងដទៃទេ" ។

ចំណែកខាងយើងជាភិក្ខុបច្ចិមប្រទេស អ្នកឯណាមួយដែលបានរូបពាក្យអំពីសេចក្តីស្គាល់យុត្តិធម៌ តែខ្លួនមួយដែលតែងតាមជាប់នឹងរូបយើង ដែលបានរូបអំពីសេចក្តីជឿដោយភ័ន្តច្រឡំអំពីរង្វាន់និងទោសដែលជារបស់មិនភ្លឺច្បាស់សាសនាយើង នោះត្រូវតែទទួលជឿថាកម្មដែលជាអំពើនិងសេចក្តីដែលចេញពីអំពើទៅជាហេតុនិងផល (កម្មវិបាក) នេះ ត្រូវគ្នានឹងវិធីសម្រាប់វិជ្ជាក្នុងលោក ជាទំនើបទើបនឹងកើតថ្មី នេះ ហើយដែលគួរសម្គាល់ទុក ។

ត្រង់នេះ ពួកអ្នកបច្ចិមប្រទេសដដែលគ្នាអំពីផលនៃកម្មដែលហាក់ដូចជាពួកកាន់ពុទ្ធសាសនាមិនសូវរវល់ជាដំបូង មានអ្នកកាន់ពុទ្ធសាសនាពីបុរាណជាដើម ស្មានត្រង់នេះគឺខ្ញុំចង់និយាយតាមសេចក្តីយល់ឃើញរបស់ខ្ញុំ ឯឆន្ទៈនៃមនុស្សនីមួយៗ នោះ ជាកម្លាំងនៃហេតុដែលបានសម្រេចទុកឬមិនមែនទេ ចំណែកខាងអ្នកកាន់ពុទ្ធសាសនាថាមនុស្សយើងនេះគ្រាន់តែជាប្រជុំនៃធាតុផ្សេងៗ ប៉ុណ្ណោះ ដែលកើតឡើងដោយហេតុដែល

យើងបានស្គាល់ឬដោយយើងមិនបានស្គាល់ រូបមនុស្សទឹងអ៊ីវ ជារូបធម៌ ឬជានាមធម៌នោះសុទ្ធតែជាកម្លាំងទាំងអស់ ចំណែកខាងពុទ្ធសាសនានោះ មានសេចក្ដីថាមិនមែនព្រោះតែមានរូបទេទើបមានចិត្តមានសញ្ញា ។ល។ គឺព្រោះតែមានចិត្តមានសញ្ញាទើបមានរូបឡើង អំពីសេចក្ដីឯកចិត្តទំនេរ ដែលអ្នកប្រាជ្ញក្នុងបច្ចិមប្រទេសបានយល់នោះ មិនមានត្រូវគ្នាបន្តិចសោះ នឹងសេចក្ដីឯកចិត្តក្នុងពុទ្ធសាសនា កាលណាតែគម្ពីរក្នុងពុទ្ធសាសនា និយាយអំពីសេចក្ដីឯកចិត្តនោះ ជាសេចក្ដីផ្សេងទៅវិញ គឺជាសេចក្ដីឯកចិត្តទំនេរដែលបានដោយជនម្នាក់ បានទូវសេចក្ដីចេះដឹងស្គាល់កម្មក្នុងលោកនេះទាំងអស់ បានស្គាល់សេចក្ដីអាក្រក់គឺទុក្ខ បានស្គាល់សេចក្ដីមិនទៀងនៃរូបទាំងអស់សេចក្ដីមិនទៀងនៃលោក ហើយសេចក្ដីដែលបាននេះ មានកម្លាំងលើសលប់លើសេចក្ដីខ្លាចលើសេចក្ដីប្រាថ្នា គឺជាសេចក្ដីឯកចិត្តទំនេរម្យ៉ាងដែលពុទ្ធបរិស័ទទាំងឡាយ អាចនឹងកែប្រែនៃហេតុដែលសម្រេចអំពើរបស់ខ្លួន ទៅខាងអនាគតកាល តែឥតធ្វើនូវផលរបស់អំពើជាអតីតកាលឲ្យបាត់ស្រឡះឡើយ គឺគ្រាន់តែកែតម្រូវនៃហេតុ នោះដោយផលរបស់អំពើដែលបានបំពេញ ដោយចេតនាក្នុងការដែលកែសម្រួលប៉ុណ្ណោះ ។

គម្ពីរ ចុល្លវគ្គ មានបញ្ជាក់វិធីនេះថា៖

អនាថបណ្ឌិក ជួបនឹងព្រះពុទ្ធពីព្រលឹមហើយនិយាយថា ខ្ញុំតែងតែនឹកថា ព្រះអង្គបានផ្ទំជាសុខ ។

ព្រះអង្គឆ្លើយថា តថាគតផ្ទំសុខជាដរាប ព្រោះតថាគតទំនេរ ៈ

ធម្មតាជនឯណាដែលបានបោះបង់លោកចេញ ដែលជាមនុស្សមិនមានខ្វល់ខ្វាយ ដែលជាមនុស្សរួចអំពីសេចក្ដីប្រាថ្នា រួចអំពីបំណងដែលចងយើងទៅនឹងតែដែលមានរូប (ឧបធិ) ដែលបានបំបាត់សេចក្ដីកង្វល់ចេញដែលបានរំលត់ទុក្ខចេញពីក្នុងខ្លួន អ្នកឯណាដែលបានស្គាល់សេចក្ដីសុខនៅក្នុងស្មារតីបរិបូណ៌ទៅដោយសេចក្ដីសុខ អ្នកនោះនឹងដេកជាសុខៗ

ឯសេចក្ដីឯកចិត្តទំនេរនេះ មានតែនៅក្នុងកាលជាអនាគតនោះទេ ព្រោះក្នុងបច្ចុប្បន្ននេះជាប់ទៅក្នុងអំពើអំពីអតីតកាលទៅហើយ ។

ម្យ៉ាងវិញទៀត សេចក្ដីប្រសើរដែលជាឧត្តមដល់យើង ជាជាតិទៅក្នុងបច្ឆិមប្រទេសនោះ គឺសេចក្ដីដែលបានសម្ដែងថា ចូរប្រុងប្រយ័ត្នក្នុងការដែលនឹងធ្វើកិច្ចអ្វីៗ កុំធ្វើទៅហើយទើបប្រយ័ត្នជាក្រោយ គេបានបន្ទោសដល់ពុទ្ធសាសនាថា យកឯរបស់ឥតរូបមកតាំងធ្វើជាគោលបំផុតរបស់ជីវិតៈហើយយើងនឹងត្រឡប់មកនិយាយពាក្យដដែលខាងលើនេះវិញឲ្យបានសេចក្ដីពីលើគឺថាដោយគេមិនស្គាល់នូវសេចក្ដីពិត ឯមនុស្សដែលទំនេរនោះ គឺមនុស្សដែលមិនជាប់ខ្លួនទៅនឹងផលរបស់អំពើដែលខ្លួនធ្វើ គឺដោះខ្លួនចេញអំពីផលឥតមានប្រាថ្នាទៅក្នុងផលដែលខ្លួនធ្វើនោះឡើយ ។

ឯកម្មនេះគេនឹងថាជាធម៌ដែលកើតជាធម្មតាក៏បាន មិនមែនជាធម៌ដែលរំលែករែកមកពីណាឡើយ អំពើទាំងឡាយដែលធ្វើនោះសុទ្ធតែមានផលជាដរាប ក្នុងជាតិដែលមនុស្សណាបានធ្វើអំពើនោះឬក្នុងជាតិ ជាអនាគត មានសូត្រ ១ ប្រៀបឲ្យយើងថាដូចជាមនុស្សម្នាក់ដេកលក់ក្នុងវេលាយប់ មនុស្សនោះក្រោកឡើងហើយអុជចង្កៀងហើយ ស្រែកហៅស្មៀនរបស់ខ្លួនមកហើយសូត្រសេចក្ដីសំបុត្រ ១ ឲ្យសរសេរតាម លុះសរសេរសំបុត្រស្រេចហើយស្មៀននោះក៏វិលទៅវិញ មនុស្សនោះក៏លត់ចង្កៀងហើយ ត្រឡប់ទៅដេកលក់វិញដូចកាលមុន ឯអ្នកដែលសូត្រសេចក្ដីសំបុត្រ ចង្កៀងដែលអុជ ស្មៀនដែលសរសេរ ក៏បាត់ទៅទាំងអស់ គេមានសល់អ្វីទៅ គឺនៅសល់តែអំពើដែលធ្វើគឺសំបុត្រ សំបុត្រនោះនឹងផ្ញើទៅឯណាៗ ហើយកើតមានជាអំពើថ្មីទៀតតទៅ គឺស្រមោលនៃដំរិតគឺចិត្ត ១ ដែលគិត ១ ក្លួតនោះកើតឡើង ដឹងហើយស្លាប់ទៅវិញទុកកិរិយាដែលធ្វើនៅជាក្រោយ ។

ពាក្យទាំងអស់ក្នុងពុទ្ធសាសនានៅមានពាក្យមួយ ប៉ះពាល់ដល់ជាតិក្នុងបច្ចិមប្រទេសជាខ្លាំង គឺពាក្យដែលថានិវាណ បាលីហៅថានិព្វាន ពាក្យនេះមនុស្សទាំងអស់បានស្គាល់គ្រប់គ្នា តែមិនបានដឹងសេចក្ដីអធិប្បាយនៃសព្ទនេះ ពួកអ្នកប្រាជ្ញដែលបានហាត់រៀនពុទ្ធសាសនានោះ ពុំដែលគ្នាមិនចេះជ្រះស្រឡះសោះឡើយ ហើយនៅតែមិនប្រាកដលុះដល់

សព្វថ្ងៃនេះ ត្រូវតែអស់អ្នកបញ្ជាក់សេចក្ដីសង្ស័យនេះដល់យើងដែលជាមនុស្សត្រូវគេជ្រាបទៅដោយវិជ្ជាផ្សេងៗ សម្រាប់លោកដើម្បីពន្យល់នូវគំនិតដែលជាសេចក្ដីប្លែកណាស់អំពីគំនិតយើងនោះ ប្រសិនបើយើងមិនហាក់ចិត្តទេ យើងមិនត្រូវគ្រាន់តែកែប្រែគំនិតយើងឡើយ គឺត្រូវបោះបង់ចោលចេញដើម្បីសង់ជាគេហដ្ឋានថ្មីលើគោលនិងផែនទីថ្មី ដែលជាពាស់ខុសអំពីកន្លែងនិងគោលមុន ។

ព្រោះតែហេតុដូច្នេះហើយ បានជាមានចំនួនជាតិក្នុងបច្ចិមប្រទេសជាច្រើនទុកដាក់វិញ្ញាណនេះថាជារបស់ទទេស្អាត សេចក្ដីនេះគេព្រមព្រៀងគ្នាអស់ទៅហើយ ប៉ុន្តែពិតជាខុសណាស់ ឧបមាថាបើយើងជឿថាទទេស្អាតមែន នោះឃើញដូចជាមាននៅសេចក្ដីសង្ស័យ ប្រសិនបើគេឈ្វេងគិតបន្តិចតាមដោយវិជ្ជាក្នុងលោក ព្រោះក្នុងស្រុកឥណ្ឌានោះ គ្មានគំនិតថាវិញ្ញាណនោះទទេស្អាតនេះសោះ ហើយមិនដែលតាំងគិតក្នុងចិត្តផង បើយើងយោលទៅដល់ក្បួនគម្ពីរផ្សេងៗ ក្នុងស្រុកឥណ្ឌា នោះយើងឥតមានឃើញគោលអ្វី១ ដែលចេញពីទទេនោះឡើយ ពួកហិណ្ឌូជឿថារបស់អ្វីដែលគ្មាននោះនឹងមកបដិសន្ធិមិនបាន ហើយរបស់អ្វីដែលមានរូបហើយគ្មានផុតរលត់ទៅណាឡើយ ថាមានតែផ្លាស់រូប ទៅពីរូប១ ទៅរូប១ទៀត ឥតមានកើតជាថ្មីឬបាត់ទៅឯណាឡើយ ។

ក្រៅពីនេះទៀតយើងបានដឹង ហើយថាវិញ្ញាណខាងពុទ្ធសាសនា

វិញនោះ ជាដែលជាពិតនោះអត្តភាពរបស់មនុស្សនោះ ឥតមានឡើយ ហើយបើគ្មានអត្តភាពដូច្នេះក៏មិនអាចនឹងមានអ្វីសូន្យដែរ ។

ម៉្យាងទៀតយើងត្រូវតែរកសេចក្តីអធិប្បាយ ឲ្យប្រាកដនៃសព្វនិព្វាន ហើយមានអ្នកប្រាជ្ញពួកខ្លះ ប្រហែលជាបានដឹងប្រាកដ ចំណែកអ្នកដែលសៀវភៅកាន់ពុទ្ធសាសនានោះ និយាយពាក្យនេះដោយកម្រណាស់ ហើយទុកដាក់និព្វានដូចជាក្នុងស្ថានដើម ដែលយើងបានពោលមកហើយ គឺជាជាចិត្តនៃបុគ្គលដែលចម្រើនការនោ ហើយបានដល់ទីអវសាន បានប្រាកដនូវវិជ្ជាជាទីបំផុតក្នុងជាតិដែលនៅជាមនុស្ស គឺជាកិរិយាចិត្តដែលជនឯណាបានដល់សេចក្តីទំនេរ ដូចខ្ញុំបានពោលមកអម្បាញមិញនេះ ។ ដោយហេតុនោះហើយ តាមដោយគំនិតរបស់ខ្ញុំ ជាជាប្រយោជន៍ដល់ជាតិអ្នកនៅក្នុងបច្ចិមប្រទេស និងសិក្សាអំពីសេចក្តីនេះនេះសិន ជាមុននឹងឈោងទៅរកគំនិតអំពីនិព្វាននោះ ដូច្នេះយើងឃើញថាជាដើមទុនសម្រាប់យើងនឹងសម្រួលការសិក្សាអំពីពាក្យនេះ អ្នកកាន់ពុទ្ធសាសនាពីបុរាណអធិប្បាយអំពីនិព្វាននោះ ជាជាកិរិយាចិត្តនៃបុគ្គលឯណា ដែលបានដល់ហើយនូវសេចក្តីទំនេរ ដែលបានឈ្នះនូវកម្ម ដែលបានឃើញច្បាស់នូវសេចក្តីមិនទៀងនៃវត្ថុទាំងអស់ ដែលបានដឹងច្បាស់ជាមិនមែនជាខ្លួនប្រាណ ។

ពិតមែនតែគម្ពីរក្នុងពុទ្ធសាសនា មានអធិប្បាយអំពីសត្វទៅក្នុងស្ថាន

ឯទៀត ដែលជាទីឥតរូប ប៉ុន្តែបានទាំងអស់នេះក៏ដូចជាបានយើងដែរ ដោយធាតុទាំងប៉ុន្មានដែលបែកចេញពីគ្នានោះ អាចនឹងផ្សំគ្នាឡើងវិញបាន ហើយនៅក្នុងសេចក្តីលាយ នៅក្នុងសេចក្តីវិនាស នៅក្នុងសេចក្តីមិនទៀង ជាដរាបគ្មានកន្លែងជាស្រេចជាប់ខាតនិងឈប់សម្រាកឡើយ ។

តែឯខាងអរិយបុគ្គល ដែលលោកបានដល់ហើយនូវព្រះនិព្វានវិញ នោះកាលដែលនៅរស់នៅឡើយ បានកន្លងផុតមាត់ទ្វារ ដែលលោកយើងនេះនិងសេចក្តីមិនទៀង បែកដែនគ្នានឹងទីដែលទៀងជានិច្ច ដែលឥតប្រែប្រួលផ្លាស់ប្តូរទៅជាអ្វីទៀត ឯអ្នកកាន់ពុទ្ធសាសនានោះ បានសម្គាល់ថាមាននិព្វាន ធម្មតាដែលជានិព្វាន កាលដែលព្រះអរិយបុគ្គលបានក្នុងជាតិជាមនុស្សលោកនេះ និងបរិនិព្វានដែលបានដល់ពេលដែលព្រះអរិយបុគ្គលមរណភាពនោះលាយនូវធាតុផ្សេង ៗ ដែលផ្សំឡើងជារូប ប៉ុន្តែត្រង់នេះជាសេចក្តីសម្គាល់ សម្រាប់ខួរក្បាលយើងដែលនឹកដោយសេចក្តីកន្តប្រឡូវនៃរូបនឹកទៅដោយសេចក្តីជឿថាធាតុទាំងឡាយទៀង ។

ព្រះអរិយបុគ្គលដែលលោកបានថ្នាក់ជាន់បំផុតនៃវិជ្ជា បានដល់ទីដែលគ្មានអណ្តូងវែលហាក់ដូចជាសេចក្តីលាយខន្ទដីកសម្រាប់យើងកល់គ្នា គឺធាតុទាំងឡាយដែលប្រជុំឡើង ធាតុទាំងឡាយដែលលាយទៅវិញ នោះព្រះអរិយ បានច្បាស់វា ជាក្តៅដែលចងគ្នាជាប់ទៅវិញទៅមកប្រែប្រួលកើតស្លាប់ឥតមានឈប់ សាត់អណ្តែតទៅដោយអាកាសជានិច្ច

តាមដោយពិតនោះគឺសេចក្តីស្លាប់និងរស់នេះចេះតែមានត ៗ តាមដោយមានបដិសន្ធិ គឺផ្តើម ចេញចូលនោះ ហើយជាជីវិតនៃយើងដែលបានដល់វិនេះហើយនោះមិនមានសេចក្តីចលាចលអ្វីឡើយ គឺមានតែសេចក្តីចម្រើនដែលព្រះអរិយៈកាន់យកនោះបើមិនបានដល់ទៅដើមឫស ឬគោលដើម ក៏បានត្រឹមកន្ទុំងដែលផុតពីព្រំខណ្ឌនៃរូបវែរ សេចក្តីនេះបានដកយកមកពីសៀវភៅ មាំដាំអាឡិកសង់ជ្រាដាវិទ ជាសេចក្តីច្បាស់ជាងគេត្រឹមត្រូវជាងគេក្នុងជាតិបច្ចិមប្រទេស ដែលបានអធិប្បាយអំពីគំនិតក្នុងពុទ្ធសាសនាទៅជាគំនិតក្នុងបច្ចិមប្រទេស អំពីសេចក្តីមរណៈនិងអំពីវិញាន ៗ

ក្នុងគម្ពីរពុទ្ធសាសនាទាំងឡាយ ដែលបានប្រែចេញជាភាសាបារាំងសែសនោះ យើងមិនឃើញមានសេចក្តីអធិប្បាយ ឲ្យច្បាស់ជាងសេចក្តីដែលពោលខាងលើនេះទេ គឺជាស្ថាននៃចិត្តរបស់បុគ្គលដែលបានទូវសេចក្តីទាំនេះ ហើយខ្ញុំមិនជឿថាដូច្នេះឡើយដោយហេតុ ២ ស្ថាន ស្ថានទី ១ គឺថាព្រះពុទ្ធអង្គទ្រង់នៅវៀងតែនឹងសេចក្តីដែលយល់ឃើញរបស់ព្រះអង្គ គឺជាសេចក្តីដែលដដែលគ្នា អំពីរឿងដែលប្រាថ្នាយើងគិតមិនដល់នោះ នោះមិនល្អឡើយ ស្ថានទី ២ គឺថាសេចក្តីសង្ឃឹមទៅខាងឆាយសេចក្តីស្លាប់នោះ ជាគ្រោះអាក្រក់ ព្រោះសេចក្តីសង្ឃឹមនេះជាចំណងដែលចងយើងជាប់ទៅនឹងខ្លួនប្រាណចងជាប់ទៅនឹងសេចក្តីប្រាថ្នា ឲ្យឃើញខ្លួនប្រាណកើតឡើងដែលជាការនាំឲ្យមិនបានទូវសេចក្តីទាំនេះដែល

ពោលមកនេះ ចំណែកខាងព្រះអរិយៈក្នុងព្រះពុទ្ធសាសនានោះ ខ្លួនប្រាណនេះគ្មានឡើយ ពិតមែនតែទើបបាននូវព្រះនិព្វានជាក្រោយក្នុងជាតិនេះ ហើយនិព្វាននេះ ក៏នៅតែជាដែលឥតប្រែប្រួល វេលាដែលរូបនោះរលាយបាត់ទៅ ។

សេចក្តីអធិប្បាយនៃពាក្យសំស្ក្រឹតថា និព្វាណនោះបានសេចក្តីថា "ផុតពីទុក្ខ ១ ឲ្យរលត់" តើគេផុតពីអ្វី ក្នុងគម្ពីរ សំយុត្តនិកាយ យើងបានឃើញសេចក្តីដូចមានខាងក្រោយ អំពីនិព្វាន គឺមានពាក្យសួរទៅព្រះសារីបុត្តថា និព្វាននោះគឺអ្វីថា គឺរលត់សេចក្តីប្រាថ្នា រលត់សេចក្តីស្អប់ខ្ពើម រលត់សេចក្តីវង្វេង នេះហើយដែលគេហៅថានិព្វាន ។

ក្នុងសុត្តនិបាតនោះ មានសម្តែងថាដែលបានឃើញច្បាស់នូវសេចក្តីមិនទៀងបានលះបង់នូវសេចក្តីត្រេកអរក្នុងខន្ធបាន លះបង់ចោលនូវសេចក្តីសង្ស័យចេញនោះ នឹងបានរំលត់នូវសង្ខារទុក្ខទាំងអស់ ទាំងថ្ងៃទាំងយប់គឺបានដល់ហើយនូវព្រះនិព្វាន ។

យើងនឹងពិនិត្យមើលសេចក្តីអធិប្បាយក្នុងទីដើមជាថ្មីឡើងវិញ គឺថា និព្វាននោះហាក់ដូចជារលត់នូវកំណើតនៃខ្លួនប្រាណ នៃសេចក្តីប្រាថ្នានៃសង្ខារទុក្ខ នៃសេចក្តីវង្វេងបាន ប្រាសចាកទុក្ខ ផុតអំពីកម្ម តាំងតែអំពីជាតិជាមនុស្ស ដែលគេរលត់ដោយផុតនោះ គឺរលត់នូវសេចក្តីវង្វេងដែលបាំងបំពួននូវសេចក្តីពិតមិនឲ្យឃើញ ដែលបំពួននូវសេចក្តីមិនទៀង

ក្នុងលោកនេះមិនឲ្យយើងឃើញ ឯនិព្វាននេះគឺជាទីខាងនាយ ប៉ុន្តែមិនមែនជាខាងនាយសេចក្តីស្លាប់ឡើយ គឺជាខាងនាយនៃសេចក្តីវង្វេង ខាងនាយនៃសេចក្តីជឿខុស ជាសុខតែជាទៀង សុខតែជាខ្លួនប្រាណ ។

មាដាំអាឡិកសង់ដ្រាដាវិឌ បាននិយាយថា ឯសេចក្តីស្លាប់នោះ គ្មានជាប្រយោជន៍អ្វីក្នុងផ្លូវដែលទៅកាន់និព្វានឡើយ ឯខន្ធដែលរលាយទៅហើយឯធាតុនីមួយៗ ដែលផ្សំគ្នាឡើងនោះ ត្រឡប់វិលកើតជារូបថ្មីទៀត តែឥតបានជិតជិតដល់និព្វានឡើយ មនុស្សរស់ដែលបានឃើញច្បាស់នូវកងទុក្ខទាំងអស់ បានធ្វើចិត្តឲ្យល្អិតមុនដែលស្លាប់ បានពិចារ-ណាលំអិតកំរេចនូវធាតុដែលកើតឡើងជារូប ជនឯណាមិនមានសេចក្តីប្រាថ្នាក្នុងចិត្ត មិនជាប់ចំណងអ្វីនឹងចិត្ត ដែលគ្មានសេចក្តីប្រាថ្នាយ៉ាងមាំដែលគ្មានសេចក្តីស្រឡាញ់ឬស្អប់ក្នុងរបស់ទាំងឡាយ ដែលនៅជុំវិញខ្លួន ហើយបានពិចារណាកំរេចរបស់ទាំងនោះ ដូចជាបានពិចារណាក្នុងខ្លួនឯង ដែលជននោះឯងហើយបានដល់នូវនិព្វាន ។

ព្រះអរហន្ត ដែលលោកបាននិព្វាននោះ គឺខ្លួនលោកនៅរស់នៅឡើយ ចំណែកខាងយើងកាលគ្នាឃើញនូវសេចក្តីប្លែកគ្នាយ៉ាងធំ ត្រង់ដែលព្រះអរហន្តលោកនៅរស់ ត្រង់ដែលលោករំលាយធាតុដែលផ្សំជាជារូបទៅវិញ ចំណែកខាងលោកដែលបានដល់នូវនិព្វាននោះ ឥតមានប្លែកអ្វីពីគ្នាឡើយ ។

ឯចំណែកយើងជាជាតិក្នុងបច្ចិមប្រទេស បើមិនអាចនឹងយល់ចិត្តដែលមានតែព្រះអរហន្តប៉ុណ្ណោះ ទើបលោកធ្វើបានដោយភាសាយើងមិនចំពោះ ខ្ញុំស្មានថាប្រហែលជាថាឲ្យជិតទៀតៗ ដល់សេចក្ដីពិតបាន គឺថាជាស្ថានចិត្តដែលបានឃើញ ជាស្ថានចិត្តស្ងើ ។

ខ្ញុំបាននិយាយថា ព្រះពុទ្ធទ្រង់បោះបង់ចោល ទុកដោយចំណែកសេចក្ដីក្នុងបរមត្ថ ដោយទ្រង់ឃើញថាមិនមែនជាផ្លូវប្រតិបត្តិ ដល់មនុស្សចំណែកខាងព្រះអង្គ ជាសេចក្ដីសិក្សាក្នុងផ្លូវនេះឥតប្រយោជន៍នោះហើយគ្មានផលផង ឥតប្រយោជន៍ពីព្រោះមិនចេះចប់សោះ ហើយគ្មានអ្នកឯណាមានគាំងអ្វីឲ្យពិត ដើម្បីដេញដោលបញ្ឈាក់ដល់អ្នកសម្ដែង ប្រសិនបើមានគាំងដើម្បីបញ្ឈាក់ក្នុងសេចក្ដីស្មាត់កំបាំងអំពីកទឹកដី អំពីមុនមានសត្វឬអំពីដើមកំណើតសត្វ អំពីជីវិត អំពីសេចក្ដីស្លាប់វិញនោះ សេចក្ដីនោះមិនមែនជាបរមត្ថឡើយ គឺជាវិជ្ជាបណ្ដាយវិញ ហើយមនុស្សយើងត្រូវតែសិក្សាក្នុងផ្លូវទាំងនោះ ដែលថាគ្មានផលនោះព្រោះបើរៀនវិជ្ជាទាំងនេះទៅ នោះឥតមានផលអ្វីទៅលើសេចក្ដីដែលធ្វើឲ្យផុតពីកងទុក្ខដែលជាសេចក្ដីតែមួយដែលព្រះពុទ្ធអង្គទ្រង់សម្ដែងទូន្មាន ព្រះអង្គបានច្បាំងនឹងកងទុក្ខដោយសេចក្ដីព្យាយាមរបស់ព្រះអង្គ ដោយអំណាចពិចារណារបស់ព្រះអង្គដែលមានដើមប្រាជ្ញាដល់សេចក្ដីខ្ពង់ខ្ពស់រូបអង្គ និងជីវិតនៃរបស់ដែលនៅជុំវិញយើងតែប៉ុណ្ណោះ មាននិទាន ១ ក្នុងពុទ្ធសាសនាថា "ចុះហេតុអ្វី

បានជាព្រះពុទ្ធមិនសម្ដែងប្រាប់សិស្សថា លោកនោះផុតឬមិនផុត ហើយព្រះពុទ្ធនៅរស់ឬស្លាប់វេលាក្រោយដែលបរិនិព្វានទៅ ដោយហេតុជាជីវិតរបស់មនុស្សនោះ មិនសំចតនៅលើគោលតារកដូច្នោះឡើយ ឯលោកនោះនោះនៅទៀងឬមិនទៀង មិនផុតឬមានព្រំខណ្ឌតែងតែមានកងដែលក្រសោបនូវកំណើត នូវជរា នូវមរណា នូវទុក្ខគ្រប់ស្ថានជាដរាប ប្រាកដជាដូច្នេះហើយ យើងមិនត្រូវជឿថាមិនមែនឡើយ ព្រោះកម្លាំងប្រាជ្ញារបស់ព្រះពុទ្ធ នោះខ្លាំងហើយ ជ្រៅទូលាយពន់ពេកណាស់ ក្នុងផ្លូវបរមត្ថប៉ុន្តែព្រះអង្គទ្រង់ស្ងៀមនៅក្នុងស្ថាននេះ ដោយស្ថាននេះចេញមកពីសេចក្ដីដែលមានលក្ខណៈដែលត្រូវឲ្យពិចារណារះរក ហើយម្យ៉ាងវិញទៀតក្នុងផ្លូវនេះ សេចក្ដីដែលឃើញច្បាស់និងប្រាប់តទល់គ្នាមាត់នឹងមាត់ មិនកើតផង ។

គម្ពីរ១ ឈ្មោះសំយុត្តនិកាយ ដែលខាងសៀវឧលដង់បែរបាន ប្រែចេញពីបាលីនោះមានសេចក្ដីជាតាងដល់យើងថា "នៅវេលាដែលព្រះសម្ពុទ្ធគង់នៅក្នុងព្រៃ ១ នៅជិតទីបនគរកោសម្ពីនោះ ព្រះអង្គបានចាប់ស្លឹកឈើ ២-៣ សន្លឹកក្ដាប់ក្នុងព្រះហស្ត ហើយទ្រង់សួរពុទ្ធបរិស័ទថា ស្លឹកឈើដែលនៅក្នុងដៃតថាគត ហើយនិងស្លឹកឈើដែលនៅជាប់លើដើម តើស្លឹកឈើឯណាច្រើនជាង ពុទ្ធបរិស័ទទាំងឡាយ ឆ្លើយតបវិញថា គឺស្លឹកដែលនៅជាប់លើដើមច្រើនជាង ហើយព្រះសម្ពុទ្ធបើក

ពុទ្ធទុសួរទៀតថា ឯធម៌ដែលតថាគតគេឃើញនោះ ក៏ដូចជាស្លឹកឈើនោះដែរ គឺធម៌ដែលតថាគតគេហើយពុំបានសម្តែងប្រាប់ដល់អ្នកទាំងឡាយនៅច្រើនជាងធម៌ដែលតថាគតសម្តែងហើយពន់ពេកណាស់ បានជាថាយ៉ាងដូច្នេះ ព្រោះធម៌ដែលតថាគតមិនបានសម្តែងនោះ ជារបស់ឥតប្រយោជន៍ដល់អ្នកកល់ក្នុងផ្លូវរំលត់សេចក្តីប្រាថ្នា រំលត់សេចក្តីស្លាប់ ក្នុងផ្លូវទំនេរ ក្នុងផ្លូវបេះដឹង ក្នុងផ្លូវនិព្វាន ដែលតថាគតសម្តែងប្រាប់អ្នកទាំងឡាយនោះ គឺថាយ៉ាងដូចម្តេចដែលហៅថាទុក្ខ យ៉ាងដូចម្តេចហៅថាកំចាត់បង់នូវទុក្ខ ទាំងនេះហើយដែលតថាគតសម្តែង ។

ក្នុងមិលិន្ទបញ្ហាដែលបានពោលហើយពីខាងដើមមកនោះ ក៏មានធ្វើឲ្យយើងយល់អំពីសេចក្តីប្រដៅរបស់ព្រះពុទ្ធដែរ "គឺព្រះនាគសេនបានថ្វាយព្រះពរទៅស្តេចមិលិន្ទថា ដែលព្រះសព្វញ្ញុពុទ្ធបានឆ្លើយប្រាប់ដល់មាលុង្ក្យបុត្ត ដែលទូលសួរព្រះអង្គអំពីរឿងនោះនៅមានទៀត ឬអស់ហើយនោះគឺមិនមែនដោយព្រះអង្គមិនដឹង ឬព្រះអង្គបង់លាក់មិនប្រាប់ឡើយ គឺដោយបែបដែលរិះរកនេះ ចូលទៅក្នុងបរមត្ថថាដែលត្រូវជៀសវាងចេញ ព្រោះគ្មានយោបល់ ឬ វត្ថុសម្រាប់ទីនិត ។

ព្រះពុទ្ធមិនមែនប្រដៅសិស្សក្នុងផ្លូវងងឹត មិនមែនប្រដៅឆ្ងាយពីសេចក្តីពិត ដូចសាសនាឯទៀតដែលតែងយកផ្លូវបរមត្ថមកប្រដៅសិស្សនោះឡើយ គឺប្រដៅតាមការគួរដែលយើងពិចារណាទៅឃើញពិតមែន

ជនទីមួយ ៗ មានឯកចិត្តនឹងគេ នឹងជឿតាមទំនើងរបស់ខ្លួន តែជាសេចក្តីវិះក្រៅអំពីផ្លូវដែលរំលត់ទុក្ខ គឺជាសេចក្តីដែលចេញមកពីដើមអត្តយ៉ោង ឧត្តមដែលបម្លែងថា មិនត្រូវជឿសេចក្តីដែលផ្ទុយនឹងសេចក្តីពិត គឺដើមអត្តដែលយើងបានអធិប្បាយមករួចហើយ លក្ខណៈដែលសំខាន់ជាងគេ ដែលព្រះពុទ្ធកប់អាននោះគឺការទា ដើម្បីកាន់យកផ្លូវដែលមានមែក ៨ ត្រូវដឹងថាពុទ្ធសាសនានេះ មិនមែនជាសាសនាឥតកិរិយា សាសនាដែលបោះបង់ចោល សាសនាដែលមិនទទួលយក ដូចជាជាតិបច្ចិមប្រទេសយល់នោះទេ គឺជាសាសនាតាមបំណាង គឺជាសាសនាច្បាំងដោយបុទ្ធីអានុភាពពេញទី ហើយឯច្បាំងនោះរឹងប៉ឹងពេកណាស់ តែកុលបុត្រដែលសិក្សាខំតយុទ្ធតែម្នាក់ឯង ដោយកម្លាំងរបស់ខ្លួន តាំងពីវេលាដែលចាប់សិក្សាជាដំបូងទៅ គឺជាសេចក្តីមួយទៀតដែលចេញមកពីវិធីផ្ទុយគ្នា នឹងសេចក្តីមិនពិគ្រោះ គឺជាសេចក្តីបញ្ជាក់នៃផ្លូវពិត ហើយច្បាំងនោះពេញជាពិបាក ដោយអ្នកសិក្សាឥតមានបង្គោលផ្អែកអាងទៅលើសោះ ព្រោះស្ថាន ឬទណ្ឌកម្មក្នុងជាតិក្រោយ ព្រោះទេវបុត្រទេវតាទាំងអស់សុទ្ធតែជារបស់មិនទៀង ឥតមានពឹងពាក់ដល់សេចក្តីអស្ចារ្យ ឬ បាដិហាររបស់ទេវតាណាសោះ អ្នកកាន់ពុទ្ធសាសនាបានសម្រេចតែខ្លួនឯងដោយសេចក្តីពិតដែលខ្លួនបានឃើញ ហើយប្រាស

ពាក់ពោលកង់ទុក្ខទាំងអស់ មានមនុស្សជាអនេកបានសម្រេចរួចទៅ លុះបានដឹងដូច្នេះហើយនោះ ក៏នឹងថា ព្រះពុទ្ធសាសនានេះជាសាសនាឥតបែប ជាសាសនាយល់សុបិនមិនបានឡើយ ដោយកិរិយាភាវនាមិនមែនជាយល់សុបិនឡើយ ហើយយើងមានភស្ដុតាងទៀតប្រសិនបើយើងរំពឹងទៅដល់គម្ពីរក្នុងពុទ្ធសាសនាជាច្រើនទៀត មានអ្នកតែងរឿងក្នុងពុទ្ធសាសនាជាន់ខ្ពស់ ១ ឈ្មោះ អាចន្ទមេត្រិយ បានតែងគម្ពីរ ១ ឲ្យឈ្មោះថា "អជដីកុលរធ្ងរ អ្ហ្យុជីមិត្ត" ដែលមានសេចក្ដីអធិប្បាយ អំពីបែបហាត់ចិត្តយ៉ាងច្បាស់ល្អ គឺដូចគេហាត់លើកដៃ លើកជើងដូច្នោះដែលដូចជាហាត់កែប្រែទម្លាប់ខ្លួន ឯសេចក្ដីហាត់នោះ កាលដើមទម្លាប់ធ្វើដោយប្រុងស្មារតី លុះយូរបន្តិចទៅឥតប្រុងប្រយ័ត្នព្យាយាមប៉ុន្មាន ហើយតទៅទៀតក៏តែដៃតែជើងស្រាលឡើងមានឧបមាដូចជាសេចក្ដីប្រាថ្នា នឹងចិត្តរបស់យើងដូច្នោះដែរ ចិត្តល្អៀងរបស់យើងនឹងកែប្រែទៅបាន ដោយកិរិយាហាត់ ហើយយូរៗទៅ សេចក្ដីដែលយើងទម្លាប់ធ្វើក៏បានស្ទាត់ទៅ មនុស្សណាម្នាក់ដែលមានសេចក្ដីក្រោធខ្លាំង សេចក្ដីកាចសាហាវខ្លាំងនោះ អាចនឹងបន្ថយបានដោយសំបែ ប្ដូរទំនេរពេលវេលាតែថ្ងៃ ដើម្បីហាត់ទម្លាប់ចិត្តទៅកាន់ទាន ទៅកាន់ចិត្តល្អ ដោយអំណាចសេចក្ដីហាត់នេះ ចិត្តល្អនិងចិត្តសទ្ធាធ្វើទាន នឹងកើតឡើងមិនខាន ហើយចិត្តថ្មីនេះ ក៏ចេះតែចម្រើនឡើង ព្រោះបង់ពោលកំហឹងនិងសេចក្ដី

កាចសាហាវរបស់ខ្លួនចេញ ។

ផ្លូវដែលល្អហើយប្រាកដ ដើម្បីឈ្នះនូវសេចក្តីលាមកដែលយើងត្រូវចៀសវាងចេញនោះ គឺផ្លូវភាវនានោះឯងនឹងសេចក្តីប្រមូលផ្តុំចិត្ត ឯផ្លូវភាវនានេះ ជាកូនសោនៃចិត្ត ជាបែបយ៉ាងដែលធ្វើខ្លួនឲ្យបរិសុទ្ធ និងសេចក្តីហាត់ចិត្ត ហើយជាដើមឫសនៃសេចក្តីប្រព្រឹត្តកាន់យកពុទ្ធសាសនា ។

ប្រៀបឧបមាដូចជា ឥដ្ឋដា មានថ្មីដៃ ដែលនៅចំពោះមុខខ្លៅ ឬគ្រឿងចក្រដែលចាស់ខ្លៅហើយមិនដើរ គេក៏បញ្ឈប់ចក្រនោះពិនិត្យមើលគ្រប់កន្លែង ហើយយកដែកឆាប ឆារតម្រូវខ្លៅទៅ លុះតែដើរស្រួលល្អឡើងដូច្នេះត្រូវតែយើងគិតជាប្រយោជន៍របស់យើង អំពីខ្លៅរបស់ប្រាជ្ញាយើង គឺត្រូវហាត់កែប្រែសម្រួលដោយសមាធិភាវនា ។

មានបែប ៦ យ៉ាងដែលត្រូវភាវនា គឺបែបទី១ ត្រូវរំពឹងឲ្យជ្រៅលើវត្ថុនីមួយៗ ដើម្បីច្បាស់នូវកំណើតរបស់នោះ (សម្មាសតិ) បែបនេះគឺត្រូវកំទេចពិចារណា លុះដល់ទីបំផុតរបស់អ្វីនីមួយៗដែលនៅជុំវិញខ្លួនរបស់អ្វីដែលជាប់នឹងខ្លួនយើង ដូចជាចិត្តនិងវេទនា ។ អ្នកតែងគម្ពីរពោលមកលើនេះបានបញ្ជាក់ថែមទៀតថាកិរិយាដែលធ្វើការអ្វី ១ មានពេលមានកំណត់នោះឲ្យឆ្ងាយនឹងធ្វើធម៌នេះបាន អ្នកឯណាដែលរម្ងាប់ខ្លួននឹងដើរលេងនឹងបរិភោគអាហារដោយពេល ជាទៀងរៀងរាល់ថ្ងៃនោះហើយជា

កិរិយាហាត់ចិត្តទម្លាប់ ដើម្បីធ្វើធម៌ឲ្យកើតដោយងាយ ដោយផ្លូវភាវនា ដែលសំដៃពេលរាល់តែថ្ងៃ ដើម្បីភាវនាផ្សំចិត្តឲ្យមូលនោះ ជាការនាំឲ្យបានសម្រេចក្នុងផ្លូវល្អដោយងាយ ។

ប៉ុន្តែភាវនាម្យ៉ាងទៀតគឺហាត់ចិត្តយើងដោយរំឭកដល់អំពើដែលបានធ្វើសញ្ញាដល់ចិត្តដែលកើតឡើង ឬដល់វេទនាក្នុង ១ថ្ងៃៗ ឬក្នុង ១ អាទិត្យ ឬក្នុង ១ ខែ ឬក្នុង ១ ឆ្នាំ ដូច្នេះឃើញថា តាមដោយភាគនោះ ព្រះពុទ្ធសាសនាមានប្រយោជន៍ភាន់ពេកណាស់ ដល់គំនិតពួកយើងជាជាតិក្នុងបច្ចិមប្រទេស បើគ្មានគំនិតគេបានអ្វីជាប្រាជ្ញាភ្លឺច្បាស់ ទោះបីជាមានអ្នកពិចារណាជ្រៅជ្រះ ក៏គង់តែមានគំនិតខុសអ្វីខ្លះដុះនៅក្នុងខួរក្បាលដែរ គំនិតដែលគិតខុសក្នុងការតាំងឡាយក្នុង ១ ថ្ងៃៗនោះ មិនកែសម្រួលដោយពិចារណាបាន គឺយកគំនិតផ្សេងមកការពារ ប្រសិនបើចិត្តដែលយើងផ្សំនោះបានស៊ាំទៅហើយ ។

ឯភាវនានោះត្រូវពិចារណា ក្នុងខ្លួនទិនកិច្ចរបស់ខ្លួនដែលប្រព្រឹត្តផង ឯកិច្ចនោះជាគិរីប្រឲ្យឈ្មោះថាកិច្ចសម្ពន្ធចិត្ត "ឯភាវនាផ្លូវអសុភដែលមានសម្ពន្ធក្នុង ទីឃនិកាយនោះទោះ ញ៉ាំងសិស្សឲ្យពិចារណាសម្ពន្ធរូបខ្លួនទិនរូបមនុស្សទាំងឡាយឯទៀត ឲ្យសម្ពន្ធពិចារណាមើលទទេ" "ព្រោះរូបទាំងអស់សុទ្ធតែទទេ" រូបពីនោះត្រូវពិចារណាចិត្តវេទនា ហើយខាងក្រោយបំផុតត្រឡប់មកពិចារណាសច្ចៈទាំង៤វិញមាន

កាលខ្លះក្នុងវិធីទាំងនេះ មានសេចក្ដីប្រហែលនឹងធម៌តាសរបស់ពួកសេ-ណាន់ គឺត្រង់នេះហើយដែលនាំឲ្យជាតិអឺរ៉ុបនិយាយថាគោលចារិកយ៉ាងធំរបស់ព្រះពុទ្ធសាសនានោះ គឺជាសេចក្ដីប្រងើយកន្តើយ ប៉ុន្តែមិនមែនជាដូច្នោះទេ ព្រោះអ្នកដែលសិក្សាពិតនោះបានសេចក្ដីសុខឥតឈឺចាប់ទៅដោយអ្វីៗ គឺបាត់បង់នូវកង្វល់ទាំងអស់ ។

បែបការនាទី ២ ដែលហៅថា សម្មាសមាធិ ឬប្រមូលផ្ដុំត្រង់នោះគឺមកផ្លូវ អដ្ឋង្គិកមគ្គ ក្រោយបំផុត ជាតិអឺរ៉ុបដំបូងដែលបានប្រែគម្ពីរផ្លានោះ បានពន្យល់យើងអំពី សម្មាសមាធិ នោះថាជាបែបសណ្ដំ គឺខ្ជិនចិត្តឥតកម្រើកឡើយបានជានាំឲ្យមានពាក្យ ថាព្រះពុទ្ធសាសនានេះជាបែបឥតកិរិយាបែបខ្ជិលច្រអូស គឺជាបែបដែលខ្ញុំបានវិនិច្ឆ័យសេចក្ដីរួចហើយ ឯជាតិអឺរ៉ុបឯណាដែលខំយកចិត្តទុកដាក់មើលគម្ពីរ ខំរកសេចក្ដីអធិប្បាយដោយពិតប្រាកដនោះ បានសេចក្ដីចេះដឹងជាច្រើនហើយ សព្វថ្ងៃក៏បានជឿជាងពីកាលជាន់មុន គម្ពីរ ធម្មបទ សម្ដែងថា "សិស្ស របស់ព្រះគោតម ភ្ញាក់ជានិច្ចកល់ពេលវេលា" មានគម្ពីរ ១ ទៀតឲ្យន័យដល់យើងអំពី សមាធិ ថា "គឺជាឆ្មាំនៃចិត្ត" ។

ឯកិរិយាផ្ដុំចិត្តនោះនឹងធ្វើបានលុះតែកិច្ចឯទៀត បានធ្វើរួចជាស្រេចហើយ ក្នុងកិច្ចទាំងនោះ គឺមានព្យាយាមដ៏ប្រពៃដែលជាមែកទី ៦ នៃអដ្ឋង្គិកមគ្គ បើអ្នកសិក្សារស់នៅក្នុងភេទជាបព្វជិតឬក្នុងសីល មាន

គំនិតខុស គឺជាមនុស្សមានទុក្ខ ផងឯណាដែលបានទៅពីលើគំនិតខុស ហៅថាអ្នកគិតត្រូវ ហើយឯខ្លួនអ្នកដែលគិតត្រូវនោះ មិនកើតឡើងវិញ មិនបាត់ទៅ មិនស្លាប់ទៅ មិនតក់ស្លុត មិនប្រាថ្នាអ្វី ព្រោះគ្មានអ្វីសោះ នឹងកើតឡើងវិញ ហើយបើមិនកើតឡើងវិញដូច្នោះ នឹងបាត់ទៅវិញដូចម្តេចបាន បើមិនបាត់ទៅវិញដូច្នេះនឹងស្លាប់ដូចម្តេចបាន បើមិនស្លាប់ដូច្នេះនឹងតក់ស្លុតអ្វីបាន បើមិនតក់ស្លុតដូច្នេះ នឹងមានសេចក្តីប្រាថ្នាដូចម្តេចកើត ។

សេចក្តីដែលធ្វើចិត្តឲ្យប្រាសចាកផុត ឲ្យរួចពេញនេះហើយជាផ្លែពិតប្រាកដ ជាតួនៃព្រះអរហន្ត ជាបេះដូងរបស់ តាបស ជាគោលដែលសំដៅយក ។

គំពីរឿង ការ៉ា ៖ ខ្ញុំរើថាជាថ្មីទៀត គឺជាបែបដែលមិនទាន់យល់ច្បាស់សោះនៅក្នុងប្រទេសយើង ហើយលុះតែជាគំអ៊ីបជាន់កណ្តាលដែលខំសូត្ររៀនរកឲ្យច្រើន ទើបអាចនឹងផ្លាស់គំនិតត្រូវវិញបាន ។

មានគោលមួយទៀតដែលអស់អ្នកបានឮជាតិអ៊ីប ដែលពេះគិតឬមិនពេះសោះជឿច្រំឡំថា ព្រះពុទ្ធសាសនាជាសាសនាខ្វាច ដែលនិយាយដូច្នេះនោះ គឺសុទ្ធតែពួកដែលមិនបានរិះរកមើលគម្ពីរឲ្យច្បាស់ហើយឲ្យយល់ពីព្រះពុទ្ធសាសនាសោះ ហើយឃើញត្រង់ដែលថាក្នុងលោកនេះ សុទ្ធ

តែខ្លួនតាំងអស់ហើយទុកស្មើដូចជាជៀសវាង ព្រោះបង់ពីច្បាំងទាំងអស់ ថាជាផុតសេចក្តី ថាជាសេចក្តីចុះចាញ់នៃមនុស្សឥតវិជ្ជា តែតាមដោយពិតនោះគឺកិរិយាដែលស្គាល់ពុទ្ធិ របស់ខ្មាំងសត្រូវហើយតបច្បាំងគ្នានោះ ជាសេចក្តីចុះចាញ់គេបមិនច្បាំងឬអ្វី តើជាការទុកខ្លួនជាចាញ់ជាមុនឬអ្វី ឬថាជាការគៀបមើលកម្លាំងជាគូច្បាំងឬមិនច្បាំង មិនមែនដូច្នោះចំណែកខាងពុទ្ធសាសនាគេនិយាយថា "ខ្មាំងរបស់អញគឺសេចក្តីខ្ទកក្តងលោភៈ រឹងរបឹងណាស់នៅពេញពាសខ្លួនចៅ ប៉ុន្តែយើងតាំងពីរ ត្រូវតែទល់គ្នា ហើយណាត់ដៃអាក្រក់តបង្គុះ តាំងច្បាំងតែម្នាក់ឯងឥតមានញញើត ហើយខំប្រឹងឡើកម្លាំង ១០ ដងឡើង ពោះខ្មាំងនោះមានដុំប៉ុន្មានក្តី អាចនឹងការពារបានទាំងអស់ បើដូច្នេះតើមានខ្មាំងពីណាមក តើដែលដឹងស្គាល់គ្រោះថ្នាក់អ្វីមួយ ៗ ជាសេចក្តីខ្លាចឬអ្វី ចុះគេហៅថាខ្លាចដែរឬអ្វី គ្រូពេទ្យម្នាក់ដែលមកមើលមនុស្សជម្ងឺ ហើយប្រាប់ទៅឪពុកម្តាយអ្នកនោះថា "កូនអ្នកឯងឈឺធ្ងន់ណាស់ប៉ុន្តែតាមវិជ្ជាពេទ្យថា នឹងមើលបានបើដូច្នេះយើងនឹងមើលល្បងមើល" ហើយពេទ្យនោះ ក៏ខំញាំងចិត្តឲ្យក្លាហានផ្ចិតផ្ចង់ថ្នាំខំប្រឹងមើល ហើយក៏ចាត់ជម្ងឺនោះបាន ចំណែកខ្ញុំថាដែលត្រូវថាខ្លាចនោះ គឺជនឯណាដែលឃើញសេចក្តីអាក្រក់ ១ ឬគ្រោះកាច ១ មកដល់នេះតាំងខ្លួនជាអ្នកចាញ់ជាមុនថាឥតប្រយោជន៍នឹងតបច្បាំង ថាសេចក្តីខំប្រឹងទៅជាឥតប្រយោជន៍ដូច្នោះវិញទេ តែមិនមែនត្រូវថាព្រះពុទ្ធ

សាសនាជាខ្លាចឡើយ ដែលជាតិក្នុងលោកនេះជាប់តរៀងទៅមិនដែល ដាច់នោះ ។ ឯចម្បាំងនិងទុក្ខទាំងនេះ បើពិចារណាក្នុងចិត្តយើងទៅ នោះមិនមានឡើយ ត្រូវសាកទៅគិតមើលពាក្យដែលខ្ញុំបានថាមកហើយ ទើបច្បាស់ ឯព្រះពុទ្ធសាសនាឆ្ងាយណាស់ពីខ្លាច ឆ្ងាយណាស់ពីគេចវេះ គឺជាធម៌តចម្បាំងនិងធម៌ជ័យជម្នះ ក្នុងបឋមសូត្រមានសម្តែងថា "ខ្ញុំស៊ូស្លាប់ក្នុងចម្បាំងដែលតយុទ្ធនឹងទុក្ខកុំឲ្យតែរស់នៅហើយចាញ់ចម្បាំងនោះ" ក្នុងឧត្តរសូត្រ មានសម្តែងថា សេចក្តីដែលមិនឈឺចាប់នោះជាពីរការ ១ ជាសេចក្តីខ្ជិលច្រអូសជានិច្ច ១ ជាសេចក្តីលាមក ដោយអំណាច សេចក្តីព្យាយាមយ៉ាងមាំ ដែលមានសេចក្តីឃើញក៏ជួយផងនោះ អ្នកនឹងដកព្រួញដែលមុខមានពិស គឺសេចក្តីមិនឈឺចាប់នេះបានរួចចេញ "ក្នុង ធម្មបទ សម្តែងថា ត្រូវធ្វើទីពឹងខ្លួនឯង ខំប្រឹងធ្វើការឲ្យរស់ពីចិត្តត្រូវតែឯងនេះ" ។

ដែលថាពុទ្ធសាសនាជាសាសនាកើតទុក្ខនោះ ដែលតែថាមិនត្រូវដូចជាថាព្រះពុទ្ធសាសនាខ្លាចដូច្នោះដែរ ពេនគម្ពីរជាច្រើនដែលនិយាយអំពីចិត្តសុខ ហើយគន្ថសេចក្តីសប្បាយនៃបុគ្គល ដែលបាន[illegible]សេចក្តីផលប្រយោជន៍នៃរបស់ទាំងអស់ក្នុងលោកនេះ ហើយដែលខ្លួនទូលមរណៈដោយត្រេកអរ មានទំនុកថាដូច្នេះ "ខ្ញុំមិនប្រាថ្នាសេចក្តីស្លាប់ ខ្ញុំមិនខ្លាចសេចក្តីស្លាប់ ហើយតាំងចិត្តព្រងើយកន្តើយថា

ខ្ញុំចាំតែពេលដែលស្លាប់ ” អ្នកដែលកាន់ពុទ្ធសាសនាដោយមាំមួននោះ មិនដែលភ្ញាក់ផ្អើលនឹងសេចក្ដីស្លាប់នោះឡើយ គេទុកដូចជាការស្ងើ បន្តិចបន្តួចបន្ទាប់ទន្ទ្យទៅវិញ ។

បើជាតិក្នុងបច្ចិមប្រទេស ប្រឡំយ៉ាងធ្ងន់អំពីពុទ្ធសាសនា ជាសាសនាខ្មោច សាសនាគបៈ ជាសាសនាកើតទុក្ខ ដូច្នេះនោះ អ្នកកាន់សាសនានោះក៏គង់ត្រូវដឹងស្គាល់អំពីសេចក្ដីអាណិត សេចក្ដីដែលធ្វើចិត្តល្អ ដែលបានផ្សាយដល់សព្វអ្នក គឺមានមេត្តាយ៉ាងឧត្ដមដែលអ្នកកាន់ពុទ្ធសាសនាបានផ្សាយទៅឲ្យគ្រប់ជាតិ មិនត្រឹមតែមនុស្សលោកដូចគ្នាប៉ុណ្ណោះទេ ថែមទាំងផ្សាយហួសហួតទៅដល់សត្វទាំងអស់ សេចក្ដីមេត្តានេះកើតឡើងពីសេចក្ដីដែលថាសត្វមានជីវិតទាំងអស់នោះ សុទ្ធតែជាពួកកងដែលកើតដោយធាតុជាមួយគ្នា តែប្លែកគ្នាដោយខ្លះ កើតថៃនេះភាពដូច្នេះ ហើយខ្លះកើតទៅថៃស្រុកមានភាពដូច្នោះ គឺជាប្រជុំធាតុដែលខ្លួនចូលជាពួកនោះដែរ សេចក្ដីមេត្តាចិត្តដែលកើតឡើង ដោយឃើញថាទុក្ខនេះមានទូទៅទាំងអស់ ហើយពិបាកនឹងទ្រទ្រាំពន់ពេកណាស់ ជនឯណាដែលមិនទាន់យល់សេចក្ដីពិតទាំង ៤ ដែលជាផ្លូវអាចនឹងកំចាត់បង់នូវទុក្ខនោះឡើយ សេចក្ដីមេត្តារបស់ពុទ្ធសាសនានេះ នាំឲ្យសាសនាឯទៀតដែលជឿបែបផ្សេង ៗ ស្រឡាញ់កប់អាន ៗ មានអ្នកតែងសៀវភៅសាសនាកាតូលិកម្នាក់ឈ្មោះ លើ ដឺ ឡាកាឡេត្វ សំឡាន់ បាននិយាយ

ថាព្រះពុទ្ធសាសនាមានអំណាច គួរឲ្យយើងរាប់អានបាន គួរឲ្យយើងស្រឡាញ់បាន ហើយដល់កាលគួរឲ្យយើងត្រេកអរបានផង ។

សេចក្ដីមេត្តាចិត្តទៅនេះ ជាប់នឹងសេចក្ដីអនុគ្រោះដោយដាច់ខាតផង ហើយតាមការពិតនោះតាំងពី ២៥០០ ឆ្នាំហើយ ធម្មទេសនាដំបូងរបស់ព្រះអង្គដែលសម្ដែងក្នុងស្រុកបេនារេស (ពារាណសី) ក្នុងព្រៃឈូសនោះនៅព្រោសមកជានិច្ច គេមានគ្រឿងសត្ថ នៅតែប្រើធម៌មេត្តាអនុគ្រោះដល់អ្នកឯទៀតជានិច្ចពិតមែន តែមានកើតចលាចលជាខ្លាំង ដោយគេលុកលុយព្រះពុទ្ធសាសនាដោយកើតចម្បាំង ក្នុងត្រកូលនាំឲ្យវិប្បរិតក្នុងព្រះពុទ្ធសាសនាក្នុងកាលដើមនោះ យើងឃើញក្នុងពង្សាវតារស្រុកឥណ្ឌាថាមានស្ដេចយ៉ាងធំ១ ឈានជ័យដូចជាស្ដេចអសោកបានទំនុកបំរុងព្រះពុទ្ធសាសនា អស់ពីព្រះហឫទ័យព្រះអង្គ ហើយផ្គត់ផ្គង់នូវអ្នកកាន់ពុទ្ធសាសនា និងអ្នកបួសជ.សង្ឃអ្នកកាន់ពុទ្ធសាសនា មិនដែលយកអំណាចអ្វី.ទៅផ្សាយសាសនាឡើយគឺផ្សាយតែដោយសន្តិ បានបាត់អ្នកបួសជ.ច្រើនទៅដំបន់ឆ្ងាយៗ ឯអ្នកបួសទាំងនោះសុទ្ធតែជាព្រះអរហន្តទាំងអស់ ហើយផ្សាយធម៌វិន័យបានការជាអនេក ព្រះអរហន្តទាំងនោះសុទ្ធតែភោគកាន់ត្រៃត្រឹមត្រូវប្រដៅខ្លួនបានខ្លួនលោក ហើយលោកប្រដៅតទៅសិស្សលោកទៀតជាក្រោយ ដែលព្រះពុទ្ធ បរិនិ-ព្វាន ទៅកន្លងយូរមក ពួកព្រាហ្មណ៍ដែលមានអំណាចក្នុងជាន់នោះ នាំ

ឲ្យបាបលលុកលុយព្រះពុទ្ធសាសនា ហើចដំបំបាត់មិនឲ្យមាន ហើយ
ក៏បំបាត់បានដូចប្រាថ្នាដោយកន្លែងៗ ពួកព្រាហ្មណ៍លុកលុយ ធ្វើទុក្ខធ្វើ
បាបហើយបាចសាចឈាមរបស់ខ្មាំង គឺអ្នកកាន់ពុទ្ធសាសនានេះឯង តែ
ដល់ជាន់ក្រោយពុទ្ធសាសនាត្រឡប់បានពីលើវិញ ដោយអំណាចផ្សាយ
សេចក្តីមេត្តា ឬដោយអំណាចមានស្តេច១អង្គជួយឧបត្ថម្ភ ប៉ុន្តែដែល
បានឈ្មោះនេះ ឥតមានសង្សឹកក្ដីឡើយ គេបានបន្ទោសអំពីកើតចម្បាំង
ជាក្រោយដែលព្រះអង្គ បរិនិព្វាន គឺស្តេចស្រុកស្ពានចម្បាំងគ្នាដណ្តើម
ព្រះសារីរិកធាតុនោះ ប៉ុន្តែសេចក្តីឈ្លោះប្រកែក ឬចម្បាំងក៏ដល់នេះមិន
ដែលមានកើតចំពោះទៅនឹងសាសនដទៃ ក្នុងរឿងផ្សាយសាសនាឲ្យគេ
ជឿតាមឡើយ គ្មានអ្នកឯណា១ និយាយថាដែលអ្នកកាន់ពុទ្ធសាសនា
បានស្រោចឈាមពាលឡើយ មានកើតចម្បាំងដែរប៉ុន្តែចម្បាំងពីការផ្សេងៗ
ឯទៀតឥតមានចម្បាំងក្នុងការផ្សាយសាសនាឡើយ ត្រង់នេះហើយជាការ
ប្លែកខុសដាច់ពីគេ គឺថាពុទ្ធសាសនាជាសាសនាធំ មានមនុស្សច្រើន
សាសន៍កាន់តាម ចំនួនជាច្រើនជាងសាសនាឯទៀត តែមិនដែលផ្សាយ
សាសនាដោយរឹទ្ធិអំណាចសោះដូចមានសេចក្តី ដែលមានាំគាឡិកសង់
ជ្រាជាវិទ អធិប្បាយថា កិរិយានេះនាំឲ្យពុទ្ធសាសនា បានសេចក្តីខ្ពង់ខ្ពស់
ឧត្តម ជាទីគោរពដល់មនុស្សដែលចេះគិតពិចារណា ហើយដែលគួរតែ
ទិសិក្សាឲ្យចេះដឹងគ្រប់គ្នាទៅ ។

ដើម្បីនឹងបញ្ចប់សេចក្តីអធិប្បាយយ៉ាងវែង មិនពិស្តារមិនចប់គ្រប់គ្រាន់ ហើយតក់ច្រើនកន្លែងនេះ ខ្ញុំសារុបសេចក្តីជាដូច្នេះ

ចំពោះទឹងក្នុងជាតិកម្ពុជបច្ចិមប្រទេសនោះ ព្រះពុទ្ធសាសនាដោយសេចក្តីខ្ពង់ខ្ពស់នៃគំនិត ដោយកិរិយាដែលកាន់ហើយនូវគំនិតដែលធ្វើចំណោទ ដែលគំនិតយើងគិតមិនឃើញហើយចិត្តល្អ ដោយមេត្តាដោយអនុញ្ញាតនោះ គេទុកជាបែបធម៌អាចត្រឹមត្រូវមែនក្នុងវិជ្ជាទាំងឡាយ ។

ខ្ញុំចង់បញ្ចប់សេចក្តីអធិប្បាយនេះ ជាមុនដែលបានថ្លែងសេចក្តីអរគុណ ដល់អស់លោកអ្នកទាំងអស់ដែលបានជួយសម្រួលការនេះ ដោយបានរៀបចំទីដែលអធិប្បាយ និងដោយបានប្រែសេចក្តីអធិប្បាយនេះជាខេមរភាសា ។



# ពុទ្ធពង្សាវតារ

គឺលោក ម៉ោងសៀ លី-ហ៊ីណុក

ចាងហ្វាងសាលាបាលីវិសេសក្នុងស្រុកបូព៌ាប្រទេស

ជាអ្នករៀបរៀង

ព្រះគ្រូវិមលបញ្ញា អ៊ុម ស៊ូរ អាចារ្យព្រះរាជបណ្ណាល័យ

និង

លោកគ្រូសំរិដ្ឋា (តាត)

បានទទួលផ្ទៀងផ្ទាត់រួចហើយ



# បរិច្ឆេទទី ១

## អំពីស្រុកឥណ្ឌាក្នុងពុទ្ធសម័យ

## ចែកស្រុកឥណ្ឌា

### ស្រុកឥណ្ឌាចែកជា ២ ប៉ែកយ៉ាងធំគឺ :

ក. ប៉ែកខាងជើង គឺ អារ្យាវត្ត នៅក្នុងរវាងកណ្ដាល អំពីភ្នំហិមាលយា និង ភ្នំវិន្ធ្យា ដែលគេហៅសព្វថ្ងៃថា ហិណ្ឌូស្ថាន ។

ខ. ប៉ែកខាងត្បូង គឺទក្ខិណាបថ ដែលគេហៅថា ដេក្កង់ ។

ក្នុងកាលព្រះពុទ្ធគង់នៅនោះ មាននិយាយតែខាងចំណែកស្រុកឥណ្ឌាខាងជើងទេ ។

## កោសល

នគរដែលធំជាងគេក្នុងដែនឥណ្ឌាខាងជើង គឺនគរកោសល នគរនេះមានព្រំប្រទល់ដូចតទៅនេះ គឺខាងជើងមានភ្នំនេប៉ាល ខាងលិចនិងខាងត្បូងមានទន្លេគង្គា ខាងកើតមានស្រុកបំណុះមួយ ហៅថាប្រទេសកាសី ជាប់គ្នានឹងដែន មគធៈ ដែនកោសល នេះ ផ្សាយព្រះរាជអាណាខេត្តទៅក្នុងចំណែកខាងជើងទៀត ដល់ព្រំប្រទល់ដែន សាក្យ ដែលជាប្រទេសនៅក្នុងអំណាច កោសលៈ ដែរ ។

ដែនកោសល មានក្រុងឈ្មោះ ស្រាវស្តី (ព. សាវត្ថី) ដែលមានអារាមឈ្មោះថាជេតពន នៅជិតទីក្រុងនោះ ហើយមានទីក្រុងធំៗផ្សេងៗទៀត គឺ អយោធ្យា (បា.អយោជ្ឈា) និង សាកេត

ដែលនៅជិតគ្នាពីមួយទៅមួយ, ប៉ុន្តែឈ្មោះទាំង ២ នេះ ប្រហែលជាចំពោះនៅលើទីក្រុងតែមួយនេះទេដឹង(១) ។ ក្នុងកាលព្រះពុទ្ធគង់នៅ, ក្សត្រិយ៍ដែលគ្រងរាជសម្បត្តិទ្រង់ព្រះនាមថាប្រសេនជិត (បា.បសេនទិ)។

ដែនកោសល ផ្សាយឥទ្ធានុភាព ទៅលើប្រទេសកដជាច្រើន មានប្រទេសកាសីជាដើម, ដែលមានទីក្រុងឈ្មោះ ពារាណសី ដែលគេហៅសព្វថ្ងៃថា បេណារេស និងមានត្រកូល ២ ទៀត គឺ ត្រកូល កោឡិយ (បា.កោលិយ)១, ទីក្រុង រាមគ្រាម និង ត្រកូល សាក្យ (បា.សក្ក) ១, ទីក្រុងឈ្មោះ កបិលវស្តុ (បា.កបិលវត្ថុ) ។

## តិរ្យរកោត

ព្រះពុទ្ធកើតក្នុងត្រកូល សាក្យ ប្រសូត្រនៅក្នុង លុម្ពិនីឧទ្យាន សព្វថ្ងៃគេហៅថា រុម្មិន្ទី ឬ បទរិយ ចម្ងាយប្រហែល ៣ គីឡូម៉ែត្រ ពីព្រំប្រទល់ដែននេប៉ាល ។

ដែលកោសល មានទំហំធំប្រហែល នឹងទំហំដែនបុរាណវិសេស ដែនទាំងមូលនេះ គឺជាខេត្ត អូធ សព្វថ្ងៃ ។

---

១- ទីក្រុង សាវត្ថី សព្វថ្ងៃនេះហៅថា សហេត-មហេត នៅប្របឆ្នេរស្ទឹង រប្តិ ខ្សែរ ជើងភ្នំ ព្រំខាងកើតចម្ងាយប្រហែល ៨០ គីឡូម៉ែត្រ ពីក្រុងអ៊ូធ (អយោធ្យា) ហើយព្រំខាងត្បូងចម្ងាយ ប្រហែល ៥០ គីឡូម៉ែត្រ ពីព្រំនេប៉ាល់ ។

# មគធ

ដែនធំទី ៤ ក្នុងប៉ែកស្រុកកណ្តាលខាងកើត គឺដែន មគធៈ ដែលពីដើមមានឫទ្ធិស្មើនឹងដែន កោសល ហើយក្រោយមកមានជ័យជំនះលើដែន កោសល នេះ ដែន មគធ នោះមានទន្លេគង្គានៅខាងជើង ហើយមានភ្នំវិន្ធ្យានៅខាងត្បូង និងខាងលិចទីក្រុងទាំងឡាយរបស់ដែននេះ បានតាំងតៗគ្នា មកនៅក្នុងតំបន់មួយគឺក្នុងដែលតំបន់ខាងកើតនៅជាប់កណ្តាលស្រុក សោណ និងដែនអង្គ ។ ដែន មគធ មានទំហំស្មើនឹងពី ១០ ទៅ ១៥ ភាគ ក្នុងទំហំដែន កោសល ១០០ ភាគ គឺថាបើដែន កោសល មានទំហំ ១០០ ភាគ នោះដែន មគធ មានទំហំតែត្រឹម ១០ ទៅដល់ ១៥ ភាគទេ គឺតូចជាងដែន កោសល ។ ដែន មគធ គឺជាប្រទេសបន្ទ សព្វថ្ងៃនេះហើយ ថែមតំបន់ខាងជើងប្រទេស គយា ទៀត ៖

១- ក្រុងរាជគ្រឹះចាស់ (បា. រាជគហ) ឬ គិរិវ្រជ (បា. គិរិព្វជ) ចម្ងាយ ៦៥ គីឡូម៉ែត្រពីក្រុងបាត្នាទិសខាងត្បូងឆៀងអាគ្នេយ៍ ទីក្រុងនេះ ព្រះបាទសិសុនាគជាស្តេចគ្រងរាជសម្បត្តិក្នុងក្រុងបេណារេស បានសាងក្រុងក្នុង ក្នុងឆ្នាំ ៦៥០ មុនគ្រិស្តសករាជ ។

២- ក្រុងរាជគ្រឹះថ្មីនោះ ព្រះបាទ ពិម្ពិសារ បានសាងនៅក្បែរជើងភ្នំ ។

៣- ក្រុងបាតលីបុត្រ សព្វថ្ងៃគេហៅបាត្នានោះព្រះបាទ ឧទាយិន

ជាក្សត្រិយ៍គ្រងរាជ្យតំណមកជាជាន់ទី ៦ ពីព្រះបាទអជាតសត្រូវ បាន
សាងនៅលើស្ទឹងសោន ។

គឺក្រុងរាជគ្រឹះនេះហើយ ដែលមានព្រះវិហារ វេឡុវន (បា.
វេឡុវន) (ព្រៃឫស្សី) ដែលព្រះបាទ ពិម្ពិសារ បានវេរថ្វាយដល់ព្រះ
សម្មាសម្ពុទ្ធជាម្ចាស់ ។

នៅក្នុងពុទ្ធកាលក្សត្រិយ៍ដែល គ្រងរាជ្យក្នុងដែន មគធ គឺព្រះបាទ
ពិម្ពិសារ និងព្រះបាទ អជាតសត្រូវ នៅទិសខាងកើតដែន មគធ
មានដែន អង្គ ១, សុហ្ម ១, វង្គ ១, សមតដ ១, កាមរូប
១, នៅទិសខាងត្បូងមានប្រទេស បុណ្ឌ្រ ១ ។

ដែន អង្គ (១) ទីក្រុងឈ្មោះ ចម្បា សព្វថ្ងៃគេហៅថា ភាគល្បុរ
នៅលើឆ្នេរទន្លេគង្គាខាងស្តាំប្រទេសសុហ្ម គឺស្រុកបេង្គាលខាងលិច ។
ទីក្រុងដែលធំគឺបុរី ដែលល្បីដោយព្រាហ្មណ៍មួយឈ្មោះ ជគន្នាថ ។

វង្គ គឺស្រុកបេង្គាលខាងកើត ។

សមតដ គឺមាត់ទន្លេគង្គា ។

កាមរូប គឺស្រុក អស្សម ។

បុណ្ឌ្រ គឺស្រុក ភោតនក្បុរ ។

## ដែនវជ្ជី

ដែនវជ្ជី (បា. វជ្ជី) តាំងជាខេត្តមួយមានត្រកូល ៨ ។ ត្រកូល ៦

(១) ក្នុងពុទ្ធកាល ប្រទេសអង្គ ស្រូបចូលទៅក្នុងដែនមគធ ។

ដែលជាធំជាងគេនោះគឺត្រកូលក្សត្រដែនលិច្ឆវី និង វិទេហ ។

## ដែនលិច្ឆវី

ដែនលិច្ឆវី មានទីក្រុងឈ្មោះ វៃសាលី (បា. វេសាលី) សព្វថ្ងៃនេះគេហៅ ពសារៈ ចម្ងាយ ៤៤ គីឡូម៉ែត្រ ពីក្រុងបត្នា នៅលើឆ្នេរខាងកើតស្ទឹងគង្គា ។

## ដែនវិទេហ

ដែនវិទេហ (ឬ តីរភុក្តិ គឺ តិរហុត សព្វថ្ងៃ) មានទីក្រុងឈ្មោះមិថិលា ។

## ដែនមល្ល

នៅខាងជើងដែនវជ្ជីនិងជាខាងកើតដែន សាក្យនោះ មានពួកមល្លដែលមកពីដែនបាវា (សំ.បាបា) និងកុសិនគរមកតាំងនៅទីនោះ ។

នគរកុសិនគរ ឬ នគរកុសិនារា តាំងនៅទាំប្រជុំស្ទឹងរប្តិ និង ស្ទឹងគណ្ឌកនៅលើដែននេប៉ាល់ ។

ស្រុកបាវា នៅកណ្តាលនគរ កុសិនារា និង វៃសាលី ។

## ដែនវត្ស

ដែន វត្ស (បា. វំស) នៅខាងត្បូងដែនកោសល និង ខាងលិចដែនកាសី មានទីក្រុងឈ្មោះ កោសម្ពី (កោសម្ពី) តាំងនៅលើឆ្នេរ

ស៊ីនយមុនាខាងត្បូង, គឺកោសម ដែលនៅក្នុងតំបន់ អល្ហាបាដ ខាងទិសនិរតីទីក្រុងនេះ ។

ក្រុងកោសម្ពី ល្បីដោយព្រះវិហារ ពងវិការាម ១ ឃោសិតារាម ១ បាវារិយ ១ ។

ក្នុងពុទ្ធសម័យក្សត្រិយ៍គ្រងរាជ្យ ដែនវត្ស ព្រះនាមថា ឧទយន (បា. ឧទេន ។

## ដែនបញ្ចាល

ដែនបញ្ចាលតាំងនៅទីមួយដែលមាន ដែន កោសល នៅខាងកើតប្រទេស គុរុស នៅខាងលិចភ្នំហិមាលយា នៅខាងជើងទន្លេគង្គានៅខាងត្បូង គេសម្គាល់ឃើញមានបញ្ចាលខាងជើង (ឧត្តរ-បញ្ចាល) មានទីក្រុង ឈ្មោះ អហិច្ឆត្រ និងបញ្ចាលខាងត្បូង (ទក្សិណបញ្ចាល) មានទីក្រុងឈ្មោះ កាម្ពិល្យ (បា. កម្ពិល្ល) តាំងនៅលើឆ្នេរខាងជើងទន្លេគង្គាត្រង់ក្រឡាបណ្ដោយដែនដីចំនួន ៧៩ ក្រិដ បើចុះតាមទន្លេមកគេប្រទះឃើញក្រុង សំកាស្ស (បា.សំកស្ស) ១ និងក្រុង កាន្យាកុព្ជ (បា.កញ្ញាកុជ្ជា) កាញ្ញាកុជ្ជា សព្វថ្ងៃគេហៅថា កាណោជ១ ។

បើដើរកាត់ត្រង់តម្រង់ទៅទិសខាងលិច អ្នកដំណើរនោះគេនឹងបាន ប្រទះឃើញនូវប្រទេស មត្ស្យ (បា.មច្ឆ) ជាខាងនាយស៊ីន

ម្ពុជា ហើយនៅខាងត្បូងប្រទេស នឹងប្រទះឃើញប្រទេស សូរ-សេនៈទៀត (បា. សូរសេន) មានទីក្រុងឈ្មោះ មធុរា ។

នៅខាងជើងប្រទេស ម័តស្យ មានពូជអ្នកដែន គុរុ តាំងនៅទីនេះ ហើយតាំងឈ្មោះប្រទេសនោះថា គុរុក្សេត្រ ដែលមានទីក្រុងឈ្មោះ ឥន្ទ្រប្រស្ថ (ទេល្លិ) ។

បើដើរតម្រង់ទៅទិសខាងពាយព្យ វេលាដែលចេញផុតប្រទេស គុរុក្សេត្រ គេនឹងចូលទៅក្នុងប្រទេស ស្ទឹងប្រាំ (បញ្ជាប) ដែលឥឡូវនេះ តាំងជាប្រទេសមានទីក្រុងឈ្មោះ សាគាល (បា. សាគល) ដែលតាំងនៅលើស្ទឹងអសិក្នី ឬ ចន្ទ្រភាគ ហើយដែលគេស្គាល់ច្បាស់ថា ជាទីក្រុងរបស់ព្រះបាទ មិលិន្ទ ។

នៅខាងនាយប្រទេសនេះ មានប្រទេស គន្ធារ គឺសព្វថ្ងៃហៅថា ជាតិសាភ ដែលមានក្រុងឈ្មោះ តក្កសិលា, ខាងជើង គន្ធារ មានប្រទេសឧទ្យាន (ឧឌ្ឌិយាន ឬ ឧឌ្ឌិយាន) សព្វថ្ងៃគេហៅថា ស្វាត ហើយឆ្ងាយពីនេះទៅទៀត មានពូជកម្ពោជ “ទីក្រុងឈ្មោះ ទ្វារកា” ។

បើដើរកាត់ក្បែរភ្នំវិន្ធ្យា ខាងជើងកាត់តម្រង់ទៅខាងលិច ពីក្រុង បេណារេស ទៅក្រុង កាត្តិយាវារ គេប្រទះឃើញប្រទេស អាភីរ ១, អវន្តិ ១ និង សោវីរ ១ ។

អាគារ, ទីក្រុងឈ្មោះ វិទិសា, គឺ ភិលស្ស ទិង ក្បែរ ៗ

អវន្តិ, តមកទៀតហៅថា មាលវ, ទីក្រុងឈ្មោះ ឧជ្ជយិនី (បា.ឧជ្ជេនី) ។

សៅវីរ, កប់ចូលតាំងស្រុកស្រ្ត គឺសព្វថ្ងៃគេហៅថា កាត្តិយា-វារ ដែលមានទីក្រុងឈ្មោះ រោរុកា គឺ រូវ, និង អបរន្ត, ដែលមាន ទីក្រុងធំ១ ឈ្មោះ ភរុកច្ឆ គឺ ភរោច្ឆ និង សូប្បារកា (បា.សុប្បារក) សព្វថ្ងៃនេះគេហៅថា សោបរ ។

ខាងទិសនិរតីនៃ អវន្តិ មានស្រុក អស្សកា ឬ អស្មកា (បា. អស្សកា) ទីក្រុងឈ្មោះ ពោតលិ ។

ដើម្បីនឹងបំពេញតាមទ្រង់ទ្រាយដីដូចមានក្នុងផែនទី នោះយើងត្រូវ គប្បីរាយរ៉ាប់បើកស្រុក ឥណ្ឌា ខាងត្បូងទៀត, ពិតមែនតែផែនដីតាំង នេះចូលមកក្នុងរឿងក៏ជាខាងក្រោយ នៃពុទ្ធសម័យតែគួរនឹងលើកមក សម្ដែងដែរ ។

បើដើរតាមខាងក្រោយមាត់ទន្លេគង្គាចុះមកតាម ក្បែរសមុទ្រខាងកើតនឹង ប្រទះឃើញស្រុកដូចមានខាងក្រោយគឺ ៖

ឧត្កល ឬ ឧទ្រ គឺ ឧរិស្សា សព្វថ្ងៃនេះ កាលិង្គ នៅជា កណ្ដាល ឧត្កល និង ទន្លេគោទាវរី ទីក្រុងឈ្មោះ ទន្តបុរ ។

អន្ធ្រ នៅជាកណ្ដាលទន្លេ គោទាវរី និង ទន្លេក្រឹស្ណា

ទីក្រុងឈ្មោះ ប្រតិស្ឋា គឺបៃថាន នៅលើឆ្នេរខាងជើងទន្លេ គោធាវរី, ជាជំរង់ ឧរង្គបថ ។

ទ្រវិឌ នៅជាកណ្ដាល ប៉េន្នរ និងទន្លេកាវេរី ទីក្រុងឈ្មោះ កាញ្ចីបុរម ក្រុងជេវ៉ែង ។

ចាឡ្យ នៅជាកណ្ដាលទន្លេ កាវេរី និងទីក្រុង គោ-មោរិង ។

កេរល ឬចេរ(គឺ ត្រាវ៉ងក័រ) នៅលើត្រើយសមុទ្រខាងលិច ចាឡ្យ ។

ចោឡ្យ តាំងនៅដីទំនាបមធ្យម ក្បែរទន្លេ កាវេរី ក្រោយមកទៀតហៅថា កាណាដ ទីក្រុងឈ្មោះស្រី ស្រីរង្គបត្តន (សេរិង្គបតំប) ។

កោង្កន តាំងនៅត្រើយសមុទ្រខាងលិច ជាកណ្ដាលស្រុក ចេរ និង អបរាន្ត ។

វិធ៉កិ គឺបេរ៉ា តាំងនៅជាកណ្ដាលដែន ទេក្ខិន មានស្ទឹងក្រឹស្នានៅខាងត្បូង ។ ស្ទឹងនម៌ទានៅខាងជើងមហារាស្ត្រ តាំងនៅលើស្ទឹង គោធាវរី ខាងលើ ។

(ចប់តែនទីស្រុកឥណ្ឌាក្នុងគ្រាសម័យប៉ុណ្ណោះ)

# បរិច្ឆេទទី ២

# អំពីពុទ្ធប្រវត្តិ

---

រឿងទាំងឡាយដែលសម្តែងអំពីកិរិយាប្រព្រឹត្តទៅនៃព្រះសម្មាសម្ពុទ្ធ នោះចែកចេញជា ៤ ភាគគឺ :

១- គព្ភានិក្ខមន ចេញចាកផ្ទៃ (ប្រសូតិ)

២- បឋមាភិសម្ពោធិ បានដល់សម្មាសម្ពោធិញ្ញាណជាដំបូង (ត្រាស់ដឹង)

៣- ធម្មចក្កប្បវត្តន សម្តែងធម៌ទេសនា

៤- បរិនិព្វាន ចូលនិព្វាន ។

## ភាគទី ១

---

## គព្ភនិក្ខមន អំពីប្រសូតិ

## អំពីសុបិនព្រះមាយាទេវី

---

ព្រះបាទ សុទ្ធោទន ជាត្រកូល គោត្តម ហើយជាស្តេចសាក្យនៅក្រុង កបិលវត្ថុ មានអគ្គមហេសី ១ ព្រះអង្គមានរូបល្អបរិបូណ៌ដោយលក្ខណៈនាមថាព្រះ មាយាទេវី ជាត្រកូលកោឡិយ (បា. កោលិយ) ។ រាត្រីមួយនោះ ព្រះនាងទ្រង់សុបិនឃើញដំរីសមួយមានភ្លុក ៦ ចុះមកពីលើ អាកាសចូលទៅក្នុងផ្ទៃនាងតាមឆ្អឹងជំនីខាង

ឆ្នាំ ដែលពិតនោះ គឺទឹងជាព្រះពុទ្ធ(១) ក្នុងខាងមុខនោះឯង ចុះចាកឋាន តុសិត ក្នុងវេលាយប់នោះមកកាន់យកបដិសន្ធិ ក្នុងផ្ទៃព្រះ មាយាទេវី មាយាទេវី លុះព្រឹកស្អែកឡើងព្រះបាទ សុទ្ធោទន ឲ្យហៅព្រាហ្មណ៍ ជាច្រើនមកទាយសុបិន ព្រាហ្មណ៍ក៏បានទាយថាព្រះ រាជទេវី នឹង មានព្រះរាជបុត្រមួយព្រះអង្គ ប្រកបដោយ លក្ខណៈគ្រប់យ៉ាង ហើយ ទាយតទៅទៀតថា បើប្រសិនណាជាព្រះរាជឱរសនេះ នៅក្នុងនគរនឹង បានជាស្តេចមហាចក្រពត្តិ បើចេញពីនគរទៅនឹងបានជាព្រះពុទ្ធមួយព្រះ អង្គស្រោចស្រង់សត្វលោក ។

## អំពីប្រសូតិ

លុះដិតថ្ងៃខែនឹងប្រសូតិបុត្រនោះព្រះនាង មាយាទេវី ក៏ក្រាបព្រះ រាជហឫទ័យ បង់យាងទៅសួរព្រះវរបិតាមាតានៅក្រុង ទេវហា នាងគង់ លើវមាស មានសេនាយោធាមាត្យជាច្រើនហែហមតាមក្រោយទៅ លុះ ដល់ដើមរាំង ១ ដែលនៅចំព្រំដែនទាំង ២ គឺ កបិលវត្ថុ និង ទេវហា ហើយដែលគេហៅថាព្រៃ លុម្ពិនី (២) ព្រះនាងក៏បង្ឈប់ទៅទីនោះ ហើយយាងចុះទៅឈរក្រោមដើមរាំង លើកព្រះហស្តទៅកាន់ចាប់មែក

---

(១) តាមគម្ពីរ (ល) ភាគទី ២ ទំព័រ ១០ និង សេចក្តីប្រែទំព័រ ១២ ថាកាលណោះទ្រង់ ព្រះនាមជាស្វេតកេតុ មុននឹងចុះមក ទ្រង់បានប្រគល់ការឲ្យព្រះមេត្រីយ៍សម្តែងធម៌ទូន្មានដល់ទេវបុត្រ ទេវតាទាំងឡាយនៅឋានតុសិត (ទំព័រ ៣៩ សេចក្តីប្រែទំព័រ ៤០) ។

(២) កន្លែងនេះសព្វថ្ងៃហៅថា រុម្មិនី ឬ បទរិយ ។

ឈើនោះ មែកនោះ ក៏ទន់ទាបមកដល់ដៃនាង ក៏ប្រសូតិកូនប្រុសក្នុង វេលានោះឥតមានឈឺចាប់អ្វីឡើយ ។

ព្រះពោធិសត្វប្រសូតិមកឥតមានប្រឡាក់មន្ទិលសៅហ្មងឡើយ តែ វេលានោះ មានទេវខ្សែទឹក ២ ប្លាក់ធ្លាក់ចុះមកពីអាកាស ស្រោចស្រង់ឲ្យ មួយអន្លើ និងព្រះមាតា ។

ព្រះបរមពោធិសត្វ នៅវេលាដែលប្រសូតិចាកឧទរមាតាមក មាន មហាព្រហ្ម ៤ នាក់ យកបណ្ដាញមាសមកទទួល; រួចមហារាជទាំង ៤ស្ដេច (ចតុលោកបាល) យកស្បែកឈ្លូស មកទទួលតពៅទៀត រួចពីនោះទើបមនុស្សទាំងឡាយយកសំពត់កោសេយ្យភស្ត្រ (១) មកទទួល ពៅ តមកទៀតព្រះបរមពោធិសត្វក៏ឈរលើផែនដី ហើយឈាន ៧ ជំហានទៅទិសខាងកើត មានព្រហ្ម ១ កាន់ឆត្រធំផ្កាស់ថ្វាយ ហើយ សុយាមទេវបុត្រ កាន់សេះតាមក្រោយ លុះផ្ដាះព្រះនេត្រគ្រប់ទិស ទាំង១០ ហើយក៏បន្លឺវាចាដូចនេះ ៖

អគ្គោហមស្មិ លោកស្ស, សេដ្ឋោហមស្មិ លោកស្ស,

---

(១) តាមគម្ពីរលលិតវិស្តរ ទំព័រ ៨៣ និងសេចក្ដីប្រែទំព័រ ៣៣ គ្រាន់តែសម្ដែងថាវេលា នោះសក្ក និងព្រហ្មាយកសំពត់កោសេយ្យភស្ត្រមកទទួល ។

(២) តាមគម្ពីរ(ល) ទំព័រ ៩៣ “ជ្យេស្ឋោហំ សវលោកស្យ ស្រេស្ឋោហំ វិនាយកៈ អយំចជាតិមមបស្ចិមា ” គាថាដែលដកយកមកដាក់កណ្ដាលនេះ យក ១ បទមកសម្ដែង តាម លំអាន បាលីថា “អយំច បស្ចិមា ជាតិនាស្តិទានីបុនភវៈ” ។

ជេដ្ឋោហមស្មិ លោកស្ស, អយមន្តិមា ជាតិ, នត្ថិ-
ទានិ បុនព្ភវោ ។

សេចក្ដីថា :

ខ្លួនអញជាកំពូលនៃលោក, ជាបុគ្គលប្រសើរជាងគេក្នុងលោក ជាច្បងគេទាំងអស់ក្នុងលោក, នេះហើយជាកំណើតក្រោយគេបំផុតរបស់អញ កំណើតទៅមុខ អញគ្មានកើតទៀតឡើយ ;

រួចពីវេលានោះ គេបានអញ្ជើញព្រះនាង មាយា ឲ្យយាងត្រឡប់ចូលទៅកាន់នគរ កបិលពស្តុ វិញ មួយអន្លើនឹងព្រះរាជបុត្រ ហើយយកព្រះរាជបុត្រទៅថ្វាយដល់ព្រះវររាជបិតា លុះកន្លងទៅ ៧ ថ្ងៃ ព្រះមាយាទេវី ក៏ទិវង្គត ហើយទៅចាប់បដិសន្ធិនៅស្ថានត្រៃត្រិង្ស, ឯព្រះរាជបុត្រនោះស្ដេចបានប្រគល់ឲ្យនាង មហាបជាបតីគោតមី ជាម្ដាយមីងរក្សា ។

អំពីតាកាឡទេវិល (១) តាបសចូលទៅថ្វាយព្រះពរ សម័យមួយនោះ កាឡទេវិលតាបសចូលទៅក្នុងវាំង ហើយសូមព្រះរាជបុត្រមើល ព្រះបាទ សុទ្ធោទន ទ្រង់ត្រាស់បង្គាប់ឲ្យយកព្រះរាជបុត្រមក ហើយឲ្យថ្វាយបង្គំតាបសនោះ ប៉ុន្តែវេលានោះព្រះរាជកុមារមិនថ្វាយបង្គំ ក៏លើកជើងទាំងពីរជាន់លើផ្នួងសក់ មុនីនោះវិញ តាបសក៏ក្រោកចេញពីកន្លែង

(១) តាមចារិកផ្សេង ៗ នៅឧត្តរប្រទេស ថាឫសីនោះនាមជា អសិត (សិរ) ពេកសំគាល់ជា អសិតឬកាឡ ទាំងពីរនេះ ជាសេចក្ដីថាខ្មៅតែម្យ៉ាង ។

ហើយសំពះទៅបរមពោធិសត្វ ដូចពីសំពះទើបញញឹម ៗ ហើយយំតទៅទៀត ព្រះបាទ សុទ្ធោទនៈ ទ្រង់មានសេចក្ដីសង្ស័យ ទើបសួរទៅតាបសអំពីហេតុដែលញញឹមនិងយំ តាបសក៏ក្រាបទូលវិញថា បានជាអាត្មាភាពញញឹមវិញ ព្រោះឃើញថាព្រះអយ្យបុត្រនេះតទៅមុខនឹងបានត្រាស់ជាព្រះពុទ្ធ ១ ព្រះអង្គស្រោចស្រង់ សត្វលោក, ហើយឯអាត្មាភាពយំនោះ ព្រោះស្ដាយដោយខ្លួនអាត្មាភាពឯង មិនអាចនឹងរស់នៅចាំបានទាន់កាលដែលបានត្រាស់នោះ តែតាបសនោះបង្គាប់ឲ្យនាលក (១) ជាក្មួយទៅបួស ឯនាលកទៅមុខទៅ នឹងបានចូលក្នុងពុទ្ធសាសនាហើយបានសម្រេចនិព្វាណ (និព្វាន) ក្រោយនោះបន្តិច ។

## អំពីថ្វាយព្រះនាមដល់ព្រះរាជបុត្រ

នៅថ្ងៃទី ៥ ក្រោយប្រសូតិមានរៀបតាំងពិធីរើសនាមថ្វាយ ព្រះបរម-ពោធិសត្វ វេលានោះព្រះបាទ សុទ្ធោទនៈ ទ្រង់ចាត់ឲ្យហៅព្រាហ្មណ៍ ៣៨ នាក់ ដែលឆ្លាសក្នុងសិល្បសាស្ត្រមករើសនាមថ្វាយ ហើយព្រាហ្មណ៍ទាំងនោះក៏ថ្វាយព្រះនាមថា សិទ្ធាថ (បា សិទ្ធត្ថ) លុះបានពិនិត្យមើលលក្ខណៈនៃរូបរបស់អយ្យបុត្រស្រេចហើយព្រាហ្មណ៍ ៧ នាក់លើកម្រាមដៃពីរគ្រប់គ្នា ហើយទំនាយថា ប្រសិនបើព្រះរាជកុមារនេះនៅក្នុងនគរនឹងបានជាស្ដេចចក្រពត្រាធិរាជ, បើចេញពីនគរនឹងបានត្រាស់ជាព្រះពុទ្ធមួយព្រះអង្គ" ប៉ុន្តែឯព្រាហ្មណ៍ទី ៨ គឺ កោណ្ឌញ្ញ ព្រាហ្មណ៍

(១) តាមគម្ពីរ (ល) ថាឈ្មោះ (នរទត្ត) វិញ ។

លើកម្រាមដៃតែ ១ ហើយទំនាយថា "ព្រះអយ្យបុត្រនេះ ប្រាកដជាបានត្រាស់ជាព្រះពុទ្ធ ១ ព្រះអង្គដោយពិត" ។

បណ្ដាព្រាហ្មណ៍ទាំង ៨ នាក់នោះ, ៧ នាក់ ខាងដើម ធ្វើនូវកាលកិរិយាមុនដែលព្រះអង្គចេញពីនគរទៅ ទ្រង់ព្រះផ្នួស; ឯព្រាហ្មណ៍ទី ៨ គឺ កោណ្ឌិន្យ នៅរស់នៅឡើយ ក្នុងសម័យនោះក៏ដើរបបួលគ្នាអស់ទាំងកូនមិត្រសម្លាញ់ខ្លួន បញ្ចូលចិត្តឲ្យទៅចូលជាសិស្សព្រះបរមពោធិសត្វដែលទើបនឹងបួសថ្មី ជាមួយនឹងខ្លួនក្នុងវេលានោះមានតែ ៤ នាក់ ទៅតាម កោណ្ឌិន្យ ឯតាបសទាំង ៥ នាក់នេះ ហើយដែលគេហៅថា បញ្ចវគ្គីយ (បា.បញ្ចវគ្គិយ) គឺ កោណ្ឌិន្យ ១, វាស្ប ១, ភទ្រក ១, មហានាម ១, អស្វជិត ១ (បា.កោណ្ឌញ្ញ, វប្ប, ភទ្ទិយ, មហានាម, អស្សជិ) ។

នៅវេលាដែលព្រាហ្មណ៍ទាំងនោះថ្វាយព្រះនាមទំនាយនោះហើយ ព្រះបាទសុទ្ធោទនៈ ទ្រង់សួរទៅព្រាហ្មណ៍ទាំងនោះថា : ក្នុងស្ថានដូចម្ដេចខ្លះ ដែលកូនអញនឹងចេញចាកពីនគរទៅបួសនោះ? ព្រាហ្មណ៍ឆ្លើយថា នៅវេលាដែលបានឃើញបុព្វនិមិត្តទាំង ៤ យ៉ាង (បូវ៌និមិត្តានិ, បា.បុព្វនិមិត្តានិ); ទ្រង់សួរទៅទៀតថា និមិត្តទាំង ៤ នោះ មានប្រការដូចម្ដេចខ្លះ? ព្រាហ្មណ៍ឆ្លើយថា គឺឃើញមនុស្ស ជរា ១, ព្យាធិ ១, មរណា ១, ភិក្ខុ ១ វេលានោះទ្រង់ក៏ដាក់ការឲ្យប្រយ័ត្នយ៉ាងមាំ ដើម្បីកុំឲ្យព្រះអយ្យបុត្រឃើញរូបទាំងនោះឡើយ ។

# អំពីវិធីច្រត់ព្រះនង្គ័ល (១)

លុះដល់ផ្លូវរៀបពិធីភ្ជួរស្រែជាដំបូង ឬ សាបស្រូវ (ប្រេមង្គល) ព្រះបាទ សិរីសុទ្ធោទន ទ្រង់នាំព្រះរាជបុត្រទៅ ដោយមាននាហ្មឺនមុខមន្ត្រីរេហ៍ពលសកលយោធា ស្រីស្នំក្រមការហែហមទៅកន្លែងពិធីនោះផង លុះស្តេចទៅដល់ទីនោះ ទ្រង់ឲ្យរៀបរាជស្ថានថ្វាយព្រះរាជបុត្រក្រោមដើមជម្ពូព្រឹក្ស (ព្រីង) មានស្ត្រីស្នំនៅចាំរក្សា ប៉ុន្តែស្រីស្នំចាំផងនោះ ដោយចង់មើលរបៀបពិធីបុណ្យនោះពេកណាស់ ក៏ដើរចេញពីកន្លែងនោះទៅយូរបន្តិច លុះត្រឡប់មកវិញ ក៏ឃើញព្រះបរមពោធិសត្វ កំពុងតែពែនព្រះបាទចម្រើនអានាបាណស្សតិកម្មដ្ឋាន ក្រោមម្លប់ដើមជម្ពូដែលនៅនឹងតែកន្លែងមួយ គួរជាអស្ចារ្យណាស់ ឯម្លប់ឈើឯទៀតវិញក៏រេទ្រេតទៅតាមមណ្ឌលព្រះអាទិត្យ ព្រះបាទ សិរីសុទ្ធោទន និមិត្តតែបានជ្រាបសេចក្តីដូចនោះហើយ ក៏តែមកក្រាបសំពះសរសើរបារមីព្រះអយ្យបុត្រក្នុងគ្រានោះ ។

---

១- មុននិទានអំពីអស្ចារ្យត្រង់នេះ គម្ពីរ (ល) មាននិយាយអស្ចារ្យ ៣ ស្ថានទៀតគឺ ៖

ក) អំពីក្រសាលហោព្រះរូបនៅវេលាដែលព្រះបរមពោធិសត្វ ទ្រង់យាងចូលក្នុងហោព្រះរូបនោះរូបទាំងប៉ុន្មាននោះក៏ចុះមកក្រាបនៅទៀបព្រះបាទ (ជំពូក ៨) តាមគម្ពីរមហាវិស្តុ ភាគទី ២ ទំព័រ ២៦ ថាវេលានោះ ព្រះបរមពោធិសត្វ ទ្រង់ចូលទៅសំពះរូបនាគ អភយា ប៉ុន្តែលុះទ្រង់យាងចូលទៅដល់ ស្រាប់តែរូបនេះស្ទុះមកក្រាបថ្វាយបង្គំទៀបព្រះបាទ ។

ខ) អំពីខ្សែពេជ្រសម្រាប់ពាក់នៅក សម័យមួយនោះពួកសាក្យ បានយកខ្សែពេជ្រមកថ្វាយព្រះបរមពោធិសត្វ លុះយកមកបំពាក់ព្រះសូរងទៅ ខ្សែពេជ្រនោះអាប់រស្មីអស់នៅវេលានោះ (ភាគទី ៩)

គ) អំពីរៀនអក្សរវិធី ក្នុងថ្ងៃ ១ នោះ គេបាននាំព្រះអយ្យបុត្រចូលទៅបង្រៀនអក្សរនៅក្នុងបន្ទប់ ១ លុះចាប់រៀនទៅក៏បែកឆ្លាសជាង វិស្វាមិត្រជាគ្រូទៅទៀត (ភាគទី ១) ។

# ភាគទី ២

## បឋមាភិសម្ពោធិញាណ (ត្រាស់)

### អំពីបឋមវ័យ

*លុះព្រះបរមពោធិសត្វ ព្រះជន្មបាន ១៦ ឆ្នាំ ព្រះវរពុទ្ធបិតាបាន សាងប្រាសាទ ៣ ល្វាយឲ្យគង់គ្រប់រដូវ (រដូវ១ ប្រាសាទ១) ទ្រង់ក្រសាលសប្បាយ ក្នុងប្រាសាទទាំង ៣ មួយអន្លើនឹងស្រីស្នំបួនម៉ឺន ជាបរិវារ (នាដកី) ទ្រង់មានព្រះអគ្គមហេសី ១ ព្រះអង្គ ជាព្រះមាតាព្រះរាហុល (១) ។*

*ដោយហេតុតែក្រសាលសប្បាយ ឥតមានព្រួយបារម្ភគិតអ្វីសោះនោះ ពួកសាក្យស្រដីរិះគន់ថ្កោលទោសថា "សិទ្ធត្ថ នេះមិនបានរៀនសិល្បៈអ្វីសោះ ប្រសិនបើមានចម្បាំងមកដល់នឹងធ្វើដូចម្ដេចទៅ" ។ លុះព្រះអយ្យបុត្រ បានជ្រាបសេចក្ដីដូច្នេះហើយ ទ្រង់ឲ្យដើរវាយគងជូនគេឲ្យដំណឹងដល់ពួកសាក្យទាំងអស់ថា ក្នុង ៧ ថ្ងៃទៀតទ្រង់នឹងបញ្ចេញសម្ដែង*

---

១- ក្នុងគម្ពីរបាលីសម្ដែងថា ព្រះសិទ្ធត្ថមានអគ្គមហេសីតែ ១ ព្រះអង្គ ហើយគ្រាន់តែហៅថាមាតាព្រះរាហុល (រាហុលមាតា) តែប៉ុណ្ណោះតាមគម្ពីរ (ល) ថា ព្រះអគ្គមហេសីព្រះនាមជា គោបា ជាបុត្រី ទណ្ឌបាណិ ហើយគ្មាននិយាយអំពីរាហុលឡើយ តាមគម្ពីរ ម.វ ថា ព្រះអគ្គមហេសីព្រះនាមថា យសោធរា ជាបុត្រីមហានាមហើយជាព្រះមាតាព្រះរាហុល តាមបារីកផ្សេង ៗ នៅឧត្តរប្រទេស ថាព្រះសិទ្ធត្ថ មានអគ្គមហេសី ៣ ព្រះអង្គគឺនាង គោបា ១ (គិតបុត្រ) នាងយសោធរា (ជាមាតាព្រះរាហុល) និងនាងម្រិគជា ១ ។

វិធីឲ្យឃើញវេស្តាកល់គ្នា លុះដល់ថ្ងៃដែលកំណត់ ទ្រង់ក៏ស្ដេចចេញទៅបាញ់ធ្នូស្ទាត់ព្រួញជាងពួកខ្មាន់ទាំងអស់ ( សរភង្គជាតក (១) ) ។

## អំពីទ្រង់ជួបប្រទះនិមិត្តទាំង ៤

ក្នុងថ្ងៃមួយនោះព្រះបរមពោធិសត្វទ្រង់គង់ព្រះរាជយានរថ ស្ដេចទៅក្រសាលក្នុងឧទ្យាន វេលានោះមានទេវបុត្រមួយព្រះអង្គឃើញជារូបមនុស្សជរា លុះទ្រង់បានជ្រាបដោយនាយ សារថី ទូលថា សេចក្ដីជរានេះ នឹងមានដល់គ្រប់រូបមនុស្សជាតិ នោះទ្រង់ក៏ឲ្យត្រឡប់ព្រះរាជរថវិលចូលទៅក្នុងព្រះបរមរាជវាំងវិញ ។

លុះទ្រង់ចេញទៅក្នុងលើកទី ២ បានឃើញមនុស្សមានជម្ងឺ ហើយក្នុងលើកទី ៣ បានឃើញមនុស្សស្លាប់ក្នុងស្ថានដូចគ្នា ក្នុងលើកទី ៤ បានឃើញអ្នកបួស ហើយក្នុងវេលានោះ ទ្រង់គិតព្រះរាជហឫទ័យ បម្រុងនឹង ចេញចាកលោកសន្និវាស ប៉ុន្តែសម័យនោះ ទ្រង់យាងប្រពាសទៅដល់ឧទ្យានហើយស្រង់ជម្រះព្រះអង្គនៅទីនោះ លុះស្រង់ជម្រះព្រះអង្គរួចហើយ ទើបព្រះ វិស្សុកម្ម និម្មិតជាជាងខាន់ព្រះកេសយកគ្រឿងអលង្ការយ៉ាងល្អមកថ្វាយក្នុងវេលានោះ ៗ មានរាជទូតពីព្រះវររាជបិតាមកក្រាបបង្គំ

---

១- តាមគម្ពីរ (ល) (ភាគទី ៧) និងគម្ពីរ ម.វ. ខ្សែ ២ ទំព័រ ៧៣ សម្ដែងថាវេលាដែលដំណឹងនេះហើយថ្វាយព្រះបរមពោធិសត្វនោះ ឪពុកនាងនោះ សូមឲ្យព្រះបរមពោធិសត្វល្បងសិល្បសាស្ត្រផ្សេងៗ ឲ្យឃើញចេស្ដាសិន លុះដល់ថ្ងៃដែលកំណត់ទ្រង់ក៏សម្ដែងឫទ្ធីបាញ់ធ្នូយ៉ាងធំ ដែលទេវទត្ត ដាល់ ១ ដៃស្លាប់ ត្រូវវែងរំលងកំផែងនគរ ៧ ជាន់ ផុតទៅរួចពីនោះ ទ្រង់ប្រឡងឈ្នះក្នុងវិធីប្រាំងគ្រល់នឹងបាញ់ធ្នូទៀត ។ល។

ទូលថា ព្រះរាជបុត្រព្រះអគ្គទើបនឹងប្រសូតថ្វាយព្រះនាមថា រាហុល-កុមារ ហើយក៏ទ្រង់ត្រឡប់វិលចូលទៅក្នុងព្រះបរមរាជវាំងវិញ មានស្ត្រីម្នាក់ជាពួកសាក្យ នាមនាង ម្រឹគី ជាមាតា អានន្ទ (ឬថា គោសា គោតមី) នៅទៀប សីហបញ្ជរ លុះឃើញព្រះរូបព្រះឆោមព្រះបរមពោធិសត្វល្អប្លែកក៏ពោលព្រះគាថាថា :

និព្វុតា ខលុ តេ មាតា     និព្វុតា នូន សា មាតា
បិតា ខលុ តេ និព្វុតោ     និព្វុតោ នូន សោ បិតា
និព្វុតា ខលុ សា នារី     និព្វុតា នូន សា នារី
យស្សា កតា ភវិស្សសិ     យស្សាយំ ឦទិសោ បតិ

(ម.វ. ខ្សែ ៦ ទំព័រ ១៥៣ - ជាតកខ្សែ ១ ទំព័រ ៦.)

## អធិប្បាយជាសេចក្ដីថា

“រលត់ទុក្ខមាតាព្រះអង្គ រលត់ទុក្ខបិតាព្រះអង្គ ស្ត្រីទុក្ខ ស្ត្រីឯណា ដែលបានព្រះអង្គធ្វើជាប្ដី„ សព្ទដែលថា និព្វុត (និព្វុត) នេះ មានន័យ ២ យ៉ាង គឺ រលត់ទុក្ខឬត្រជាក់ចិត្ត នោះ ទ្រង់ក៏ឈ្វេងយល់ក្នុងសម្ដីនេះថាជាសេចក្ដីរលត់គ្លឿន ឡើងទៅកាន់សេចក្ដីសុខក្នុង និព្វាន ឯសេចក្ដីគប់គុណវិញ្ញូ ទ្រង់ក៏ដោះខ្សែកដាំដោយកែវមុក្ដាផ្ញើទៅឲ្យស្ត្រីនោះ ។

អំពីអាការដែលរលត់នៃស្ត្រីទាំងឡាយ លុះព្រះអង្គយាងពុត ចូលដល់ក្នុងព្រះដំណាក់ ទ្រង់ក៏ផ្ទំសន្ធឹងលើគ្រែគ្រឡាព្រះបន្ទំហើយ គ្រាន់

តែផ្ទៀងព្រះនេត្រទតរបាំនិងផ្ទៀងព្រះសោតទ្រង់ព្រះសណ្ដាប់ ចម្រៀង និងមហោស្រពបន្តិចប៉ុណ្ណោះក៏ផ្ទំលក់ទៅ ឯពួករបាំនិងពួកមហោស្រពក៏ ដេកតាមតាំងអស់ លុះព្រះអង្គតើនឡើងក្រោយនោះបន្តិច ទ្រង់ឃើញ ស្ត្រីទាំងនោះដេកលក់មានអាការផ្សេងៗ មានការមិនល្អ ហើយក្នុងបន្ទប់ នោះទ្រង់ឃើញហាក់ដូចជាកន្លែងសម្រាប់ខ្មោចអសុភ (១) ។

## អំពីកិរិយាចេញចោលនគរ

ដោយព្រះអង្គមានសេចក្ដីខ្ពើមរអើមលោកសន្និវាសនេះ ពេកណាស់ ទ្រង់តើនចាកក្រឡាព្រះបន្ទំ ហើយហៅឆន្នា ជានាយរក្សាសេះ (ប.ឆន្ន) បង្គាប់ឲ្យរៀបចំអានសេះកណ្ឋក ជាពាហនរបស់ព្រះអង្គ ប៉ុន្តែមុននឹងស្ដេចចេញទៅទ្រង់មានព្រះហឫទ័យ ចង់ឃើញព្រះរាជបុត្រ សិន ។

លុះយាងចូលទៅក្នុងបន្ទប់ព្រះអគ្គមហេសី ទ្រង់ក៏បានឃើញព្រះរាជ ទេវី ដោយអំណាចពន្លឺយ៉ាងតិច កំពុងតែផ្ទំលើក្រឡាព្រះបន្ទំ ដែលដេរ ដាសទោះដោយផ្កាក្រអូបជាច្រើន ដាក់ព្រះហស្ដគងទៅលើព្រះសិរព្រះរាជ

---

(១) អាការស្ត្រីដែលដេកលក់នោះជាការស្អប់ខ្ពើមណាស់ ; តែក្នុងគម្ពីរបាលីសម្ដែង ជាការនេះជ្រះឡាលឲ្យព្រះគោត្តមឃើញតែម្នាក់ឯងទេ ; គម្ពីរមហាវគ្គ បានសម្ដែងអំពីសេចក្ដី ផ្លាស់រូបនៃយស (វិន. ខ្មែរ ១ ទំព័រ ១៨ ជាដើម) ។

កុមារទ្រង់ព្រះតម្រិះថា បើទ្រង់នឹងចាប់ត្រកងរាជបុត្រឡើង សមព្រះរាជទេវី នឹងភ្ញាក់ដឹងស្មារតីមិនខាននោះ ព្រះអង្គថយមកវិញ(១) ។

ឯកណ្ឋក ជាសេះបោទព្រះអង្គមានសម្បុរសល្អយ៉ាងសមឈរចាំនៅក្រៅ ទេវតាទាំងឡាយបិទខ្ទប់សម្រែកសេះមិនឲ្យលាន់ឮ ហើយយកដៃទ្រជើងសេះចាំនៅទីនោះ ដើម្បីមិនឲ្យបណ្ដាជនទាំងឡាយភ្ញាក់ដល់ម្នាក់ឡើយ ។

លុះពេលកណ្ដាលអធ្រាត្រព្រះអង្គក៏ទ្រង់ឡើងលើសេះ ព្រះរាជយ, ន ឯឆន្នក ក៏តោងកន្ទុយសេះនោះចេញទៅ លុះដល់មាត់ទ្វារក្រៅ វេលានោះ ទេវតាដែលចាំទ្វារនោះបើកទ្វារថ្វាយព្រះអង្គចេញឲ្យផុតទៅ ។

ព្រះបរមពោធិសត្វក៏បរតែយាងទៅមុខដោយមានទេវតា ១ សែនកោដិកាន់ចន្លុះហែហមព្រះអង្គ យប់នោះជាយប់ថ្ងៃពេញបូណ៌មីខែអាសាឍ នៅក្នុងនក្សត្រ ឧត្តរាសាឍ (ថ្ងៃ ១ ស្ងួយ៉ែត) ។

ក្នុងយប់នោះព្រះអង្គយាងកាន់នគរ ៣ (២) បានចម្ងាយ ៣០ យោជន៍ដល់ស្ទឹង អនោមា សេះនោះក៏ផ្លោះរំលង ១ ដំហានផុតទៅ ។

---

(១) គាថាគម្ពីរ(ល)គ្មាននិយាយត្រង់នេះទេ ហើយគ្មាននិយាយពីរាហុលផង តាម ម រ. ខ្សែ ២ ទំព័រ ១៥៩ មាននិយាយថាក្នុងវេលាយប់ដែលព្រះអង្គចេញចោលនគរនោះហើយដែលព្រះរាហុលច្យុតមកពីតុសិតមកបដិសន្ធិក្នុងគភ៌នាងយសោធរា ថាព្រះបរមពោធិសត្វទ្រង់ចេញទៅជាមុនពេលដឹង ព្រះអង្គថាជាឪពុករាហុល ។

(២) គឺក្រុងសាក្យ ១ កោលិយ ១ មល្ល ១ (ល) ទំព័រ ២២៥ សេចក្ដីប្រែទំព័រ ១៩៦ ។

# អំពីទ្រង់សម្លៀកបំពាក់

លុះដល់ស្ទឹងត្រើយម្ខាងក៏ចុះពីខ្នងសេះ(១) ដោះអស់គ្រឿងប្រដាប់មានមកុដជាដើម ប្រគល់ឲ្យទៅ ឆន្នា ហើយកាត់ព្រះកេសាដោយព្រះខ័ន សក់ព្រះអង្គនៅសល់ប្រវែង ២ ធ្នាប់ ហើយគួចត្របាញវិលឯងទៅខាងស្តាំ ( ឯពុកចង្កាមានស្ថានដូចគ្នា ) មិនបាច់ឲ្យព្រះអង្គកាត់ឬកោរទៀតឡើយ រួចពីនោះព្រះអង្គក៏កោះព្រះកេសា និងឆ្ឍតព្រះកេសឡើងទៅលើអាកាស ហើយទ្រង់គិតក្នុងព្រះរាជហឫទ័យថា “ ប្រសិនបើអញបានត្រាស់ជាព្រះពុទ្ធមួយព្រះអង្គពិតមែន សូមឲ្យសក់និងឆ្ឍតនេះ អណ្តែតទៅលើអាកាស បើមិនបានត្រាស់ទេ សូមឲ្យធ្លាក់មកដីចុះ ” វេលានោះ ឯសក់និងឆ្ឍតនោះ ក៏អណ្តែតទៅលើអាកាសកម្ពស់ ១ យោជន៍ លុះព្រះឥន្ទ្របានឃើញក៏យកប្រអប់ ១ ដ៏មានតម្លៃមកទទួល ហើយយកទៅតម្កល់ទុកក្នុង ចូឡាមណិចេត្យ ( បា.ចូឡាមណិចេតិយ) នៅស្ថានសួគ៌ ត្រៃត្រឹង្ស (តាវតឹស) ។

រួចពីនោះព្រះអង្គទ្រង់ព្រះតម្រិះថា ឯគ្រឿងប្រដាប់ព្រះអង្គដែលជាសំពត់យ៉ាងល្អ ពីស្រុកប៉ែណារេសនោះ មិនសមគួរដល់អ្នកបួសស្លៀក

(១) ក្នុងគម្ពីរ (ល) ទំព័រ ២២៨ ។ សេចក្តីប្រែទំព័រ ១៩២ នោះ គ្មាននិយាយពីស្ទឹងនេះទេ គឺព្រះអង្គឈប់វេលាព្រឹកព្រហាមនៅក្នុងភូមិ អនុវិនេយ ជាស្រុកពួកម៉ែទេយ តាម ម.វ. ទៀប ២ ទំព័រ ៦៦ ជាព្រះអង្គឈប់នៅខាងត្បូង កបិលវស្តុចម្ងាយ ១២ យោជន៍ពីក្រុងនេះ នៅទីនេះ ហៅថា អនោមីយ នៅស្រុកមល្ល ក្បែរអាស្រម វសិដ្ឋឫសី ។

ដណ្ដាប់ឡើយ លុះទ្រង់តម្រិះហើយ ដូចនេះស្រាប់តែ មហាព្រហ្ម ១ ព្រះអង្គព្រះនាមថា ឃដិការ ជាសម្លាញ់នឹងព្រះអង្គក្នុងសម័យព្រះពុទ្ធ កស្សបៈ យកចីពរនិងគ្រឿងបរិក្ខារសម្រាប់ស្រមណ៍មកថ្វាយ ។

វេលានោះព្រះបរមពោធិសត្វ មានបន្ទូលប្រាប់ ឆន្នា ឲ្យត្រឡប់ទៅ កបិលវត្ថុ វិញមួយអន្លើនឹង កណ្ឋកា ប៉ុន្តែឯសេះក៏បែកទ្រូងស្លាប់ទៅក្នុងវេលានោះមួយរំពេច ដោយកើតទុក្ខខ្លាំង ហើយក៏ទៅកើតនៅស្ថានត្រៃត្រឹង្ស មាននាមថា កណ្ឋកទេវបុត្រ ឯ ឆន្នា ត្រឡប់ទៅវិញតែម្នាក់ឯង យំបណ្ដើរតាមផ្លូវទៅ (១) ។

ហេតុនេះហើយ ដែលព្រះបរមពោធិសត្វ ចេញពីនគរទៅក្នុងព្រះជន្ម ២៩ ឆ្នាំ ។

## អំពីដំណើរទៅក្រុងរាជគ្រឹះ

លុះព្រះបរមពោធិសត្វ គង់នៅជាសប្បាយ ដោយសេចក្ដីរីករាយក្នុងផ្នួសរបស់ព្រះអង្គកំណត់ ៧ ថ្ងៃ ក្នុងព្រៃស្វាយហៅថា អនុបិយ ហើយ

---

(១) តាមគម្ពីរ (ល) ទំព័រ ១២៩ ។ សេចក្ដីប្រែទំព័រ ១៩៩ និង ម រ ថាកណ្ឋក អាជានេយ្យត្រឡប់ទៅក្រុងកបិលវត្ថុវិញជាមួយនឹងឆន្នក ; ឧ រ. និយាយតទៅទៀតថា សេះនោះអត់អាហារស្លាប់ហើយទៅកើតនៅស្ថានត្រៃត្រឹង្ស ។

ទ្រង់ក៏ស្តេចទៅដោយព្រះបាទក្នុង ១ ថ្ងៃ ដល់រាជគ្រឹះចម្ងាយ ៣០ យោជន៍(១) ។

ហើយទ្រង់ក៏បិណ្ឌបាតចង្ហាន់នៅទីនោះ លុះបានហើយទ្រង់ឃើញថាជាបដិកូលគួរខ្ពើមក្រៃពេកណាស់ ព្រោះចង្ហាន់នោះ ជារបស់គ្រោតគ្រាតហើយព្រះអង្គក៏ពិចារណាបំបាត់នូវសេចក្តីខ្ពើមរអើមនោះចេញ ទើបព្រះអង្គអាចសោយបាន ។

ព្រះបាទ ស្រេណិយេ ពិម្ពិសារ(២) ក៏ស្តេចទៅជួបនឹងព្រះអង្គ ហើយថ្វាយនគរ តែព្រះអង្គមិនទទួល សុំប្តេជ្ញាឲ្យព្រះអង្គស្តេចមកកាន់នគររាជគ្រឹះជាដំបូង នៅវេលាណាដែលបានសម្រេចពោធិញាណហើយ ។

---

១- និទានកថា សម្តែងថា ពីកបិលពស្តុទៅស្ទឹងអនោមាចម្ងាយ ៣០ យោជន៍ ហើយពីអនោមាទៅរាជគ្រឹះចម្ងាយដូចគ្នា ក្នុងលើកទី ១ ព្រះពោធិសត្វចេញមកពីនគរដោយខ្នងសេះ ១ យប់ដល់ ហើយលើកទី ២ ស្តេចយាងទៅដោយជើង ១ ថ្ងៃដល់ ក្នុងស្ថានត្រង់នេះ បើនឹងនិយាយដោយអស្ចារ្យទើបបាន តាមសេចក្តីយោបល់របស់លោក ហ្វលេអេត ដែលជាអ្នកគិតធៀបយោជន៍ ក្នុងសៀវភៅជ្រស ឆ្នាំ ១៩១២ ទំព័រ ២២៩ ថាមានយោជន៍ ២ យ៉ាងគឺ យោជន៍វែងស្មើនឹង ៩ មិល (១៤ គីឡូម៉ែត្រ) ដែលមានទម្លាប់ប្រើក្នុងស្រុកឥណ្ឌាសម្រាប់ហោរា ហើយយោជន៍ខ្លីស្មើនឹងកន្លះយោជន៍មុនឬ ៤ មិលកន្លះ គឺ ៧ គីឡូម៉ែត្រប្រើដោយដំណែកក្នុងដែនមគធៈ ហើយប្រើជាញឹកញាប់ជាងគេក្នុងគម្ពីរពុទ្ធសាសនា ឯដំណែកក្រោសវិញមានតែ ១ ក្នុង ១ យោជន៍ខ្លីមាន ៤ ក្រោស ហើយយោជន៍វែងមាន ៨ ក្រោស បើដូចនេះឃើញថាតាមក្នុងនិទានកថាចម្ងាយផ្លូវពីកបិលពស្តុទៅរាជគ្រឹះមានចំនួន ៦០ យោជន៍ខ្លី គឺ ៤៣៥ គីឡូម៉ែត្រចម្ងាយផ្លូវនេះប្រហែលជាមិនលើសប៉ុន្មានទេ បើគិតតាមផ្លូវដែលលើកកាត់ ។

២- ពិម្ពិសារ (ឆ្នាំ ៥៤៣ ទៅ ៤៩១) និងព្រះរាជបុត្រ អជាតសត្រូវ (ឆ្នាំ ៤៩១ ទៅ ៤៥៩) គ្រងរាជ្យតំណរទី ៥ និង ទី ៦ នៅទីក្រុងដែលព្រះបាទសិសុនាគ តាំង ។

# អំពីទុក្ករកិរិយា

ក្រោយដែលទ្រង់បានរៀនវិជ្ជាអំពីសំណាក់តាបស អាឡារកាឡាម នៅវៃសាលី និងតាបស ឧទ្រកៈរាមបុត្រ (បា. ឧទ្ទករាមបុត្ត) នៅរាជគ្រឹះហើយ ហើយមិនបានគាប់ព្រះរាជហឫទ័យ នោះទ្រង់ក៏ប្ដេជ្ញាថា នឹងល្បងប្រព្រឹត្តទុក្ករកិរិយា (តែមួយព្រះអង្គឯងមើលមហាប្រធាន) វេលានោះទ្រង់យាងទៅស្ថិតនៅ ឧរុវិល្វា (១) មួយអន្លើនឹង បញ្ចវគ្គិយ កោណ្ឌិន្យ និងភិក្ខុឯទៀត ៤ នាក់ ហើយទ្រង់បង្អត់អាហារព្រះអង្គឯងកំណត់ ៦ ឆ្នាំ លុះដល់ដួលបាត់ស្មារតីដូចស្លាប់ (២) ព្រះអង្គមានអាការរាងកាយរោះរះ ស្គមនៅតែឆ្អឹង តែមិនបានសម្រេចពោធិញ្ញាណ ។ លុះព្រះអង្គយល់ឃើញថាការដែលបង្អត់អាហារព្រះអង្គឯង មិនជាការមានប្រយោជន៍ ក៏ទ្រង់យាងបិណ្ឌបាតយកចង្ហាន់ឆាន់វិញ ក្នុងវេលានោះ ពួក បញ្ចវគ្គិយ អស់សង្ឃឹម លែងទុកចិត្តលើព្រះអង្គ ក៏នាំគ្នាទៅនៅទី ១ ចម្ងាយ ១៨ យោជន៍

---

(១) ឧរុវិល្វា (បា.ឧរុវេល) សព្វថ្ងៃហៅថា ឧរេល នៅប្រហែលជនបទគយាលើស្ទឹងនិលជ្ជ ឬ លិលយ័ន ដែលជាស្ទឹងនេរញ្ជរាចាស់ ។

(២) តាមគម្ពីរ (ល) ទំព័រ ២៨៣ និងសេចក្ដីប្រែទំព័រ ២១៨ ថាវេលានោះ នាងមាយាទេវី ជាមាតា ចុះមកពីស្ថានត្រៃត្រិង្ស មកយំនៅប្រាប់ព្រះអង្គហើយព្រះអង្គក៏បានលួងលោមទៅព្រះមាតាវិញបញ្ជាក់ថា ព្រះអង្គមិនស្លាប់ទេ ។

ព្រះអង្គ (១) ហៅថា ឫសិបតន (ឥសិបតន) ក្នុងប្រទេស បេណារេស (២) ។

## អំពីគ្រឿងបូជារបស់នាងសុជាតា

មានស្ត្រីម្នាក់នៅប្រទេសឧរុវេលា នាមនាង សុជាតា បានតាំងចិត្ត

---

១- ចម្ងាយផ្លូវពីក្រុងបេណារេស ទៅភពគ្រឹះប្រហែលជា ១៤០ ម៉ៃល៍ គឺ ២២៥ គីឡូម៉ែត្រ បើរាប់ ៣ គីឡូម៉ែត្រ ៤រៃ ក្នុង ១ យោជន៍នោះបានតែ ១៣០ គីឡូម៉ែត្រ ឃើញថាតិចជាង ចម្ងាយ ដែលគិតនោះ តែគេនឹងឃើញប្រហែលជាងប្រសិនបើគេយកយោជន៍វែងមកគិតវិញ ១៨ + ១៤ គីឡូ ៩ = បាន ២១៤ គីឡូម៉ែត្រ ។

២- ឈ្មោះ សារនាថ ក្នុងដែនខាងជើងក្នុងបេណារេស នាមឫសិបតន (បា.ឥសិបតន) មាន ដើមកំណើតដូចនេះ នៅវេលាដែលទេវតាទាំងឡាយ ស្រែកប្រកាសប្រាប់ថា ព្រះពុទ្ធថ្មីកើត ហើយនោះ ប្រត្យេកពុទ្ធទាំងឡាយ ៥០០ ដែលគង់នៅទីនោះ ក៏ហោះឡើងទៅកណ្ដាល អាកាស ហើយដេះខ្លួននៅខាងលើអស់មានតែឆ្អឹងធ្លាក់មកនៅខាងលើដី ហេតុនេះទើបកន្លែង នោះគេហៅថា (កន្លែងធ្លាក់ឆ្អឹងឫសី ។ ដោយក្នុងវេលានោះ គេអនុញ្ញាតឲ្យសត្វម្រឹគរកស៊ីបាន តាមចិត្ត ក្នុងទីនោះកន្លែងនោះ ក៏ហៅថា ជាព្រៃម្រឹគ (ម្រឹគទាវ) គម្ពីរ (ល) ទំព័រ ១៨-១៩ សេចក្ដីប្រែទំព័រ ២០) ។

ប្តេជ្ញា ថានឹងយកបង្អាន់ទៅថ្វាយដើមនិគ្រោធ ១ រាល់ឆ្នាំ (១) ។

ក្នុងឆ្នាំទី ៦ ដែលព្រះអង្គទ្រង់ចង្ក្រមក្នុងព្រៃនោះ នាង សុជាតា បានរៀបធ្វើអាហារយ៉ាងឆ្ងាញ់លាយទឹកដោះគោ (បាយាស) ដើម្បីយកទៅថ្វាយដើមនិគ្រោធ (ជ្រៃ) នៅថ្ងៃពេញបូណ៌មីខែវិសាខ នាងបានប្រើបាវម្នាក់ឈ្មោះនាង បូណ្ណា ឲ្យទៅរៀបចំកន្លែងនៅដើមឈើនោះមុន លុះស្ត្រីបម្រើនេះបានដើរទៅដល់ ក៏ឃើញព្រះបរមពោធិសត្វ អង្គុយនៅទៀបគល់និគ្រោធនោះខ្លួនរស្មីពណ៌មាសជុំវិញព្រះអង្គ ស្ត្រីនោះក៏រត់ទៅឲ្យដំណឹងដល់នាងជាចៅហ្វាយនោះវិញ ថាទេវតាដើមនិគ្រោធបញ្ចេញកាយឲ្យឃើញ អង្គុយនៅក្រោមដើមឈើនោះ ។

នាង សុជាតា ក៏ដាក់បាយនោះក្នុងភាជន៍មាស វេចសំពត់ពីក្រៅ

---

១-រឿងនាងសុជាតានេះ គម្ពីរ (ល)មាននិយាយផ្សេងទៅទៀត(ល. ទំព័រ ២៦៤ សេចក្តីប្រែទំព័រ ២២៨) ថាសម័យដែលព្រះបរមពោធិសត្វ ដើរបង្ក្រមនោះ មានស្ត្រី ៣ នាក់នៅស្រុកឧរុវេលារៀបចង្ហាន់ថ្វាយ ក្នុងស្ត្រីទាំងនេះ មាននាងសុជាតាជាដើម ដែលតែងរៀបចង្ហាន់ លុះព្រះអង្គគត់មិនឆាន់អាហារ ស្ត្រីនេះក៏និមន្តព្រាហ្មណ៍មកឆាន់ក្នុង ១ ថ្ងៃ ៨០០ លុះព្រះអង្គត្រឡប់ឆាន់ចង្ហាន់វិញ នាងសុជាតាក៏ប្រើស្ត្រីបម្រើម្នាក់ឲ្យទៅនិមន្តព្រះអង្គមកឆាន់ ពីនេះក្នុងផ្ទះនាងសុជាតាដែលព្រះអង្គឆាន់បាយលាយទឹកដោះគោយ៉ាងសំខាន់នោះ (មធុបាយាស) កាលជាន់មុននោះមានស្ត្រីម្នាក់ជាចៅនាងសុជាតាស្លាប់ ហើយខ្មោចនោះ គេយកទៅចោលនៅកន្លែងកប់ខ្មោចមានរុំដោយស្បង់សំពត់ធ្វើពីធ្មៃផង ព្រះបរមពោធិសត្វក៏យកស្បង់នោះមកធ្វើជាស្បង់ទ្រង់យកទៅលាងនៅទឹកស្រះដែលទេវតានិម្មិត ហើយដំលើថ្មដែលព្រះឥន្ទ្រយកមកថ្វាយ រូបពីនោះទ្រង់ក៏កើតនឹងព្រះហស្តព្រះអង្គឯង ។

ហើយទូលលើក្បាលដើរទៅ លុះទៅដល់នាងក៏ប្រគេនបាយនោះដាក់ភាជន៍មាសលើព្រះហស្តព្រះបរមពោធិសត្វហើយត្រឡប់ទៅផ្ទះនាងវិញ ។

វេលានោះព្រះបរមពោធិសត្វក៏ក្រោកឡើងហើយ យកភាជន៍នោះទៅដាក់នៅមាត់ស្ទឹង នេរញ្ជរា ហើយចុះទៅជម្រះព្រះអង្គក្នុងស្ទឹងនោះ លុះស្រង់ស្រេចទ្រង់ក៏ពូតបាយ ៤៩ ពំនូត ហើយឆាន់ចង្ហាន់នេះហើយ ដែលព្រះអង្គឆាន់តែម្តង លុះផុតកំណត់ ៤៩ ថ្ងៃ ដែលទ្រង់គង់នៅក្រោមដើមពោធិមណ្ឌល នៅវេលាដែលបានសម្រេចពោធិញាណហើយ មិនមានឆាន់ចង្ហាន់ឯទៀតឡើយ ។

លុះព្រះអង្គឆាន់ស្រេចបរិបូណ៌ ទ្រង់ក៏បោះភាជន៍មាសនោះទៅក្នុងស្ទឹង ហើយបន្លាញវិធីភេទថា " ប្រសិនបើខ្លួនអញនឹងបានត្រាស់ជាព្រះពុទ្ធក្នុងថ្ងៃនេះ សូមឲ្យភាជន៍នេះអណ្តែតច្រាសទឹក បើមិនបានត្រាស់ទេ សូមឲ្យភាជន៍នេះអណ្តែតបណ្តោយតាមខ្សែទឹកទៅ ។ ក្នុងវេលានោះភាជន៍ក៏អណ្តែតច្រាសទឹកបានចម្ងាយ ៨០ ហត្ថ ហើយលិចទៅក្នុងទឹកទៅ ទៅចូលក្នុងវិមាននាគរាជកាឡ ត្រួតលើភាជន៍ដែលសម្រាប់ព្រះពុទ្ធមុនៗ ។

អំពី[illegible]ឈើដែលទ្រង់បានសម្រេចពោធិញាណក្នុងថ្ងៃនោះ នៅវេលាឆាន់ចង្ហាន់ហើយ ព្រះបរមពោធិសត្វយាងចូល ក្នុងព្រៃសាល (ព្រៃរាំង) លុះពេលល្ងាចទ្រង់យាងតម្រង់ទៅដើមពោធិ(១) តាមផ្លូវទៅព្រះអង្គបានទទួលស្បូវ ៨ ចាប់ពីអ្នកច្រូតស្បូវឈ្មោះ សុត្ថិក

---

១- ដើមពោធិ (ពោធិទ្រុម, ពោធិវ្រក្ស)

(បា. សោត្ថិយ) ថ្វាយព្រះអង្គយកស្បូវនោះទៅក្រោយ ដាក់ក្រោមក្រោមដើមពោធិ ហើយគង់ខ្ពោះព្រះភក្ត្រទៅទិសខាងកើត ។

## អំពីកងទ័ពនៃមារ

ក្នុងវេលានោះស្តេចមារជិះលើខ្នងដំរីឈ្មោះ គិរីមេខល នៅមុខកងទ័ពមកតយុទ្ធនឹងព្រះអង្គ ហើយធ្វើឲ្យកើតជាខ្យល់ព្យុះយ៉ាងខ្លាំងហើយបង្អុរភ្លៀងទឹកភ្លៀងថ្ម អាវុធ ល្បង ធ្លាក់មកជាភ្នក់ភ្លើង នៅទៀបព្រះបាទព្រះអង្គឯផេះ និង ខ្សាច់ត្រឡប់កើតជាម្សៅក្រអូបថ្វាយព្រះអង្គវិញ ឯបំណែកភក់ក្លាយទៅជាទឹកអប់យ៉ាងក្រអូប លុះក្រុងមារធ្វើឲ្យងងឹត សព្វទិសានុទិសស្មើព្រះអង្គក៏កម្ចាត់បង់នូវសេចក្តីងងឹតនោះចេញ ។

លុះឃើញដូចនេះ ក្រុងមារក៏ចូលមកជិត ព្រះអង្គ គំហែងហើយបន្ទឺនូវសម្រែកថាដូចនេះ " សទ្ធាថ ចៀសចេញពីកន្លែងនេះ ១ មិនមែនជារបស់ឯងទេ គឺជារបស់អញ " ប៉ុន្តែក្នុងវេលានោះ ព្រះបរមពោធិសត្វទ្រង់បញ្ឈាក់ទៅក្រុងមារវិញ ដោយអាងផលទានដែលទ្រង់បានធ្វើកាលពីជាតិមុន ១ ដោយក្រុងមារគំហែងទារឲ្យទ្រង់រកសាក្សី នោះព្រះអង្គក៏លូកព្រះហស្តទៅចាប់ ថពីអាងជាសាក្សីវេលានោះ ។ ឯផែនដីនៅវេលាដែលព្រះអង្គអាងដូចនេះហើយ ក៏បន្ទឺនូវសម្រែកឡើងបញ្ឈាក់ទៅឲ្យក្រុងមារ (១) ក្រុងមារលុះឮសម្រែកដូចនេះ ក៏បាក់ទ័ពទៅមួយអន្ទើនឹង

---

១- មើលសៀវភៅ គ. សំដេស អំពីរូបចម្លាក់.ទីនគរវត្ត ( សេចក្តីស្រង់សម្រាប់ប្រទេសអាស៊ីខាងកើត ខែ ២ ឆ្នាំ ១៩១៦ ទំព័រ ១១៧ ) ។

មានសេនាជាច្រើន ឯអស់ទាំងទេវតា ដែលភៀសខ្លួនគេចម៉ត់អស់ទៅ ដោយខ្លាចអំណាចក្រុងមារ នោះត្រឡប់មកនៅជុំព្រះអង្គវិញដដែល ៗ

## បឋមពោធិញាណ (ត្រាស់)

វេលាថ្ងៃនោះនៅមិនទាន់អស្តង្គតនៅឡើយ ដែលព្រះបរមពោធិសត្វ ទ្រង់ផ្ចាញ់ទ័ពក្រុងមារបាន ក្នុងបឋមយាមទ្រង់បានជ្រាបច្បាស់នូវជាតិរបស់ព្រះអង្គក្នុងកាលជាអតីត (បុ.បុព្វេនិវាសញ្ញាណ) ។ ក្នុងយាមទី ២ ទ្រង់បាននូវព្រះនេត្រទិព្វ (បុ.ទិព្វចក្ខុ) ។ ក្នុងយាមទី ៣ ទ្រង់បានជ្រាបច្បាស់នូវធម៌ដូចជាច្រវ៉ាក់ជាបច្ច័យត ៗ គ្នា (បុ.បដិច្ចសមុប្បាទញាណ) លុះព្រលឹមស្រាងឡើងទ្រង់បានជ្រាបច្បាស់ទាំងអស់ក្នុងលោក (បុ.សព្វញ្ញុតា) ហើយទ្រង់ក៏សរសើរដោយផ្ទះរបស់ព្រះអង្គ ដោយឧទានកថា ដែលព្រះពុទ្ធគ្រប់អង្គតែងសម្តែងថាដូចនេះ ៖

អនេកជាតិសំសារំ    សន្ធាវិសំ អនិព្វិសំ
គហការំ គវេសន្តោ    ទុក្ខា ជាតិបុនប្បុនំ
គហការក ទិដ្ឋោសិ    បុនគេហំ ន កាហសិ
សព្វា តេ ផាសុកា ភគ្គា    គហកូដំ វិសង្ខតំ
វិសង្ខារគតំ ចិត្តំ    តណ្ហានំ ខយមជ្ឈគា

(ធម្មបទ ទំព័រ ១៥៣ - ១៥៤)

# អធិប្បាយជាសេចក្ដីថា

ខ្លួនអញវិលស្លាប់វិលកើតជាអនេកជាតិ ចាំស្វែងរកខ្លួនជាងដែលសង់ផ្ទះ គឺតណ្ហាមិនបានឃើញសោះឡើយ ខន្ធ ៥ ជាគ្រឿងនាំមកនូវសេចក្ដីទុក្ខរឿយ ៗ ម្នាលជាងសង់ផ្ទះ ឥឡូវនេះ ខ្លួនឯងអញឃើញច្បាស់ហើយ ឯងនឹងសង់ផ្ទះអញទៀតមិនបានឡើយ អស់ទាំងផ្ដាននិងមេដំ-បូលក៏បាក់បែកអស់ហើយ ចិត្តដែលដល់នូវព្រះនិព្វាន លាយនឹងរលាយនូវតណ្ហាបានហើយ ។

នៅវេលាដែលព្រះអង្គសម្រេចពោធិញ្ញាណនោះ ព្រះជន្មព្រះអង្គបាន ៣៥ ឆ្នាំ (ទីបរ ខ្សែ ៤ ទំព័រ ៥៨) ។

អំពី សត្តសត្តាហ គឺ ៧ អាទិត្យ ព្រះបរមពោធិសត្វ នៅវេលាដែលបានសម្រេចពោធិញ្ញាណហើយ ព្រះអង្គគង់នៅទីនោះ កំណត់ ៧ អាទិត្យ ។

បឋមសត្តាហ គឺអាទិត្យទី ១ ព្រះអង្គនៅលើពោធិមណ្ឌលសោយវិមុត្តិសុខនិព្វាន (និព្វាន)

ទុតិយសត្តាហ គឺអាទិត្យទី ២ ព្រះអង្គសម្ដែងនូវ "បាដិហារជាគូ" (យមកបាដិហារ) ដើម្បីកម្ចាត់បង់នូវសេចក្ដីសង្ស័យនៃទេវបុត្រ ទេវតា ព្រះអង្គឈរទៅទិសឦសាន ពោធិមណ្ឌលហើយសម្លឹងនូវពោធិមណ្ឌល ដោយសេចក្ដីពេញចិត្តរបស់ព្រះអង្គកំណត់ ៧ ថ្ងៃ ទីនោះហើយដែលហៅថាអនិមិសចេតិយ (គឺចេតិយសម្លឹងភ្នែក) ។

តតិយសត្តាហ គឺអាទិត្យទី ៣ ទៅជាប់ខ្លោងទ្វារអនិមិសចេតិយ និង រតនបល្ល័ង្ក ព្រះអង្គបង្កើតជាផ្លូវមួយ ចង្ក្រមពីខាងកើតទៅខាងលិចហើយ ទ្រង់យាងតាមផ្លូវនោះ កំណត់ ៧ ថ្ងៃ ទីនោះហើយដែលហៅថារតន ចង្ក្រមចេតិយ ។

ចតុត្ថសត្តាហ គឺអាទិត្យទី ៤ ព្រះអង្គគង់ក្នុងរតនឃរៈ ដែលទេវតា និម្មិតថ្វាយ នៅខាងទិសពាយព្យនៃរតនបល្ល័ង្ក ហើយទ្រង់ពិចារណានូវ ព្រះអភិធម្មបិដកទាំង ៧ គម្ពីរ ដោយពិនិត្យក្នុងព្រះហឫទ័យ ។

បញ្ចមសត្តាហ គឺអាទិត្យទី ៥ ទ្រង់គង់នៅទៀបគល់អជបាល និគ្រោធ ហើយនៅទីនោះធីតាមារទាំង ៣ ឈ្មោះនាងតណ្ហា ១ អារតី ១ និងរាគា ១ មកបៃចង់ល្បួងលោមព្រះអង្គ តែមិនសម្រេចដូច សេចក្តីប្រាថ្នា ។

ឆដ្ឋសត្តាហ គឺអាទិត្យទី ៦ ទ្រង់យាងទៅគាន់ដើមមុចលិន្ទ ហើយ នៅទីនោះ ស្តេចនាគឈ្មោះមុចលិនមកការពារព្រះអង្គអំពីខ្យល់ភ្លៀងដោយ ភែនដែលខ្លួនពែនព័ទ្ធជុំវិញព្រះអង្គ ៧ ជុំ ។

សត្តសត្តាហ គឺអាទិត្យទី ៧ ទ្រង់គង់នៅក្រោមដើមរាជាយតន ។

## អំពីគ្រឿងបូជារបស់នាយពាណិជ្ជ ២ នាក់

នៅថ្ងៃទី ៤៩ តាំពីបានសម្រេចពោធិញ្ញាណមក ព្រះឥន្ទ្រយកផ្លែស្រមា ១ មកថ្វាយព្រះអង្គឆាន់មួយអន្លើនិងស្ទន់ ហើយនិងទឹកសម្រាប់ស្រង់ ព្រះភក្ត្រ ក្នុងវេលានោះមាននាយពាណិជ ២ នាក់ ឈ្មោះ តបុស្ស ១

និង ភល្លិក ១ មានរទេះ ៥០០ ទៅពីស្រុកឧក្កល ទៅស្រុកមជ្ឈិមប្រទេស ឈ្មួញទាំង ២ នាក់នោះ បានឈប់រទេះនៅទីចំពោះព្រះភក្ត្រព្រះអង្គហើយក៏យកនំធ្វើអំពីអង្ករ ១ ពីទឹកឃ្មុំ ១ ទៅថ្វាយព្រះអង្គ ធម្មតាព្រះពុទ្ធគ្រប់ព្រះអង្គ មិនដែលទទួលចង្ហាន់ផ្ទាល់នឹងព្រះហស្តឡើយ ក្នុងវេលានោះ ព្រះសក្យមុនីគ្មានបាត្រសម្រាប់ទទួលចង្ហាន់ ឯបាត្រដែលឃដិការថ្វាយអំពីកាលជាន់មុននោះ អន្តរធានបាត់ទៅ ហើយបានភាជន៍នានក្រុជាតាមកជំនួស ឯភាជន៍នេះក៏លិចចុះទៅចូលក្នុងវិមានស្ដេចនាគទៀត វេលានោះមហារាជទាំង ៤ (ចតុលោកបាល) នាំបាត្រ ៤ មកថ្វាយព្រះអង្គបាត្រធ្វើពីថ្មកណ្ដៀង ហើយបាត្រ ៣ ទៀត ធ្វើពីថ្មមានតម្លៃឯទៀតផ្សេងៗ តែព្រះអង្គមិនព្រមទទួល លុះថ្វាយបាត្រថ្មកែវ ៤ វិញ ទើបព្រះអង្គទទួលយក ហើយតម្រួតលើគ្នាទាំង ៤ ធ្វើជាបាត្រតែ ១ ដោយពុទ្ធានុភាពរបស់ព្រះអង្គ លុះបានទទួលនំធាន់ជាស្រេចហើយ ព្រះអង្គក៏បាននាយពាណិជទាំង ២ នាក់នោះ ជាឧបាសកដោយអំណាចសរណគមន៍ ២ បទ គឺ ពុទ្ធំ ធម្មំ សរណំ ក្នុងវេលានោះព្រះសង្ឃមិនមាននៅឡើយទេ (១) រួចពីនោះមក ដោយនាយពាណិជទាំង ២ ទូលសូមព្រះអង្គក៏ប្រទានព្រះកេសាខ្លះទៅទុកជារបស់គោរព ហើយពាណិជទាំង ២ ក៏យកទៅតម្កល់ទុកក្នុងចេតិយក្នុងស្រុកខ្លួន ។

---

១- តាមគម្ពីរ (ម.វ.) ទំព័រ ៣១០ សម្ដែងថា វេលានោះព្រះអង្គបានឲ្យសរណគមន៍ទាំង ៣ បទ គឺ ពុទ្ធំ ធម្មំ និង សង្ឃំ ដែលមានមកក្នុងកាលជាអនាគត ។

# ភាគទី ៣

## ក្នុងបរិច្ឆេទទី ២

## អំពីសម្ដែងធម៌ទេសនា

## អំពីរៀបរ៉ើ្តមនឹងសំម្ដែងធម៌ទេសនា

សម័យមួយនោះព្រះសម្មាសម្ពុទ្ធ ទ្រង់ពុទ្ធដំណើរទៅប្រថាប់នៅក្រោមដើមអជបាលនិគ្រោធ ព្រះអង្គរំពឹងពិចារណានូវជម្រៅព្រះធម៌ដែលព្រះអង្គបានជ្រាបហើយ ទ្រង់ព្រះចិន្តាថា នឹងមិនសម្ដែងផ្សាយដល់សត្វលោកទាំងឡាយផងឡើយ ក្នុងវេលានោះ មានព្រហ្ម ១ អង្គ ឈ្មោះសហម្បតិព្រហ្មមួយអន្លើនឹងទេវបុត្រ ទេវតា ជាច្រើនចុះមកអារាធនាព្រះអង្គឲ្យសម្ដែងនូវធម៌ ហើយព្រះអង្គក៏ទទួលនិមន្តនេះជាដំបូង ។

ទ្រង់ពុទ្ធបរិវិតក្កថាត្រូវប្រោសជនឯណាជាមុន មុនដំបូងព្រះអង្គព្រះចិន្តាថានឹងទៅប្រោសតាបសទាំងពីរ គឺអាឡារកាលាម និង ឧទ្រកៈរាមបុត្រ ប៉ុន្តែទ្រង់ឃើញថា តាបសទាំង ២ នោះ ធ្វើនូវកាលកិរិយាទៅហើយ ក្នុងវេលានោះព្រះអង្គក៏នឹកដល់តាបសទាំង ៥ គឺ បញ្ចវគ្គិយនៅស្រុកបេណារេស ដែលជាបរិស័ទចាស់របស់ព្រះអង្គ ។

## អំពីពុទ្ធាធិប្បាយនៅស្រុកប៉េណារេស

នៅថ្ងៃពេញបូណ៌មីខែអាសាធ (ខែមេ៉) ព្រះអង្គទ្រង់ពុទ្ធដំណើរទៅតាំងពីព្រលឹម ហើយបានជួបនឹងអាជីវកឧបកនៅនាកណ្ដាលផ្លូវ ព្រះអង្គ

កំឲ្យដំណឹងថា ព្រះអង្គបានសម្រេច អនុត្តរសម្មាសម្ពោធិហើយ លុះពេលល្ងាចក្នុងថ្ងៃជាមួយព្រះអង្គយាងដល់ឫសិបតន លុះតាបសទាំង ៥ ក្រឡេកមើលឃើញពីចម្ងាយក៏គិតគ្នាថា នឹងមិនសម្ដែងអាការជាទីគោរពចំពោះព្រះអង្គឡើយ ប៉ុន្តែលុះព្រះអង្គយាងចូលជិតទៅ ក៏ហាក់ដូចជាមានកម្លាំងអ្វីទប់មិនឈ្នះ ប្រាប់ឲ្យទៅចំពោះព្រះភក្ត្រព្រះអង្គដោយសេចក្ដីគោរពគ្រប់កិច្ចទាំងអស់ ។

វេលានោះព្រះអង្គឲ្យដំណឹងថា ទ្រង់បានត្រាស់ជាព្រះពុទ្ធហើយ ហើយព្រះអង្គសម្ដែងនូវធម្មចក្កប្បវត្តនសូត្រ (ក្នុងវេជ្ជវឌ្ឍកាសាធារិយោគ) ប្រោសតាបសទាំងនោះ លុះចប់ព្រះសទ្ធម្មទេសនានោះ កោណ្ឌញ្ញបានដល់សោតាបត្តិផលក្នុង ៤ ថ្ងៃខាងមុខទៀត ព្រះអង្គទ្រង់ទេសនាប្រោសតាបសទាំង ៤ នាក់ទៀត បានសម្រេចដល់ថ្នាក់ជាមួយ រួចពីនោះទៅព្រះអង្គសម្ដែងនូវ អនត្តលក្ខណសូត្រទៀត លុះចប់វេលាណាតាបសទាំង ៥ នាក់នោះ បានដល់អរហត្តផលក្នុងវេលានោះ ។

## អំពីកិរិយាចុះចូលនៃយស

មានបុរសជំទង់ម្នាក់ឈ្មោះ យស ជាកូននៃសេដ្ឋី នៅស្រុកពេណារស បុរសនេះមានសេចក្ដីនឿយណាយចាកសេចក្ដីសប្បាយក្នុងលោក ក៏ដើរចូលទៅក្នុងព្រៃ ឫសិបតន លុះបានស្ដាប់ធម៌ទេសនា របស់ព្រះពុទ្ធ ក៏ចូលជាឧបាសកក្នុងវេលានោះ ឯឪពុកយសក៏ធ្វើតាមកូន ហើយបានទីជាឧបាសកក្នុងវេលានោះដែរ ។

ឯយសៈដែលបានដល់អរហត្តផលបាន បានទទួលកិច្ច ២ ស្ថានគឺ "បព្វជ្ជា និង ឧបសម្បទា" (បា.បព្វជ្ជា និង ឧបសម្បទ) ឯម្តាយនិងភរិយាក៏បានបួសជាភិក្ខុនីជាដំបូង ក្រោយនោះបន្តិចមិត្រសម្លាញ់យស ៤ នាក់ ឈ្មោះ វិមល ១ សុពាហុ ១ បុណ្ណជិ ១ និង គវម្បតិ ១ បានចូលស្តាប់ទូរព្រះធ្មាក់ទទៀត ហើយបានដល់អរហត្តផលដូចគ្នា មានសម្លាញ់ ៥០ នាក់ទៀត ក៏ចូលតាមហើយបានវីដូចគ្នាទៀត ក្នុងវេលានោះមានអរហន្ត ៦១ អង្គក្នុងលោក គឺព្រះពុទ្ធ ១ បញ្ចវគ្គិយទាំង ៥ យសនិងសម្លាញ់ ៤ នាក់ ហើយនឹងមិត្តភក្តិតមក ៥០ នាក់ក្រោយទៀត ព្រះសម្មាសម្ពុទ្ធទ្រង់បាត់ព្រះអរហន្តទាំងនេះ ឲ្យទៅសម្តែងធម៌ទេសនាដោយតទ្វីរផ្សេង ៗ ហើយអនុញ្ញាតឲ្យបំបួសកុលបុត្រទាំងឡាយបាន ។

## អំពីកិរិយាចុះចូលនៃពួកកាស្សប

សម័យមួយនោះ ព្រះបរមសាស្តា ទ្រង់ពុទ្ធដំណើរចេញពីស្រុកបេណារសទៅកាន់ឧរុវេលា តាមផ្លូវទៅព្រះអង្គញុំាងភិក្ខុមានពួកជំចម្រើន (កទ្រេគិយ) ឲ្យចុះចូលតាមព្រះអង្គបាន កាលនោះក្នុងស្រុកគយា មានតាបស ៣ នាក់បងប្អូន (ជដិល) នៅទីនោះ ក្នុងអាស្រមមួយ ៗ ដាច់ពីគ្នា ហើយមានសិស្សគណជាច្រើនពល់គ្នា គេហៅថា ឧរុវេលាកាស្សប ១ នទីកាស្សប ១ និងគយាកាស្សប ១ ឯតាបសដែលជាបងគេបង្អស់នោះឈ្មោះ ឧរុវេលាកាស្សប អាស្រមនេះហើយដែលព្រះអង្គយាងចូលទៅ ព្រះអង្គ

បានសូមកាស្សបនេះសំណាក់ក្នុងផ្ទះភ្លើង (អគ្យាគារ អគ្គិសាលា) កាស្សបក៏ទទួលវិញ ថាក្នុងកន្លែងនោះមាននាគកាច ១ មានពិសខ្លាំងណាស់ ហើយមានឫទ្ធានុភាពគ្រប់យ៉ាង តែក្នុងវេលានោះព្រះអង្គឈ្នះឫទ្ធិនាគកាចនោះ លុះព្រឹកស្អែកឡើង ព្រះអង្គចាប់នាគនោះបំពេទក្នុងបាត្រយកទៅបង្ហាញដល់កាស្សប ក្នុងគ្រាមួយទៀតនៅវេលាទឹកជន់ ព្រះអង្គធ្វើឲ្យទឹកញែកចេញជុំវិញព្រះអង្គ ហើយទ្រង់យាងលើដីស្ងួតដូចធម្មតា ព្រះអង្គបានសម្តែងសេចក្តីអស្ចារ្យ ២០ យ៉ាងទៀតនៅទីនោះ តែជដិលទាំងនោះរឹងរូស មិនអាចនឹងទទួលចុះចាញ់ព្រះអង្គឡើយ លុះក្រោយបំផុតដោយព្រះអង្គគ្នះគិតវៀលជាទម្ងន់ ទើបសុខចិត្តចុះចាញ់ ហើយសូមផ្នួសក្នុងវេលានោះមួយអន្លើនឹងសិស្សទាំង ៥០០ នាក់ ឯនទីកាស្សបនិងសិស្ស ៣០០ នាក់ ព្រមទាំងគយាកាស្សប និង សិស្ស ២០០ នាក់ ក៏ធ្វើតាមបងទាំងអស់គ្នាក្នុងគ្រានោះដែរ រួចពីនោះព្រះអង្គទ្រង់គ្រួដំណើរទៅកាន់គយាសីលប្រទេស មួយអន្លើ និងភិក្ខុថ្មីទាំង ១.០០០ អង្គហើយទ្រង់សម្តែងនូវអាទិត្តបរិយាយទេសនានៅទីនោះ លុះចប់នូវទេសនាវេលាណាភិក្ខុទាំង ១.០០០ អង្គ នោះបានដល់នូវអរហត្តផលទាំងអស់គ្នា ។

## អំពីព្រះអង្គប្រថាប់នៅក្រុង

## រាជគ្រឹះ លើកទី ២

សម័យនោះព្រះសព្វញ្ញុពុទ្ធព្រមដោយភិក្ខុបរិស័ទទាំង ១.០០០ អង្គ

ទ្រង់ពុទ្ធដំណើរទៅកាន់ក្រុងរាជគ្រឹះហើយប្រថាប់នៅក្នុងព្រៃប្ញុះ យស្ដិវន ( បា. លដ្ឋិវន ) វេលានោះព្រះបាទពិម្ពិសារ ស្ដេចទៅជួបនឹងព្រះអង្គ ហើយថ្វាយខ្លួនជាឧបាសក ដោយព្រះអង្គបានទទួលនិមន្តរបស់ព្រះបាទពិម្ពិសារហើយ លុះព្រឹកស្អែកឡើងព្រះអង្គ ក៏ទ្រង់ពុទ្ធដំណើរទៅកាន់ព្រះបរមរាជវាំង មួយអន្លើនឹងពុទ្ធបរិស័ទទាំងអស់ ដោយមានព្រះឥន្ទនិម្មិតខ្លួនជាព្រាហ្មណ៍ដំទង់ពោលសរសើរនាំមុខព្រះអង្គទៅ លុះព្រះអង្គឆាន់ចង្ហាន់ស្រេចបរិបូណ៌ហើយព្រះបាទពិម្ពិសារក៏ប្រគេន "ព្រៃឫស្សី" វេឡុវន (បា. វេឡុវន) ដើម្បីតាំងវិហារមួយនៅទីនោះ ។

## អំពីសេចក្ដីចុះចូលនៃ

## សារីបុត្រ និង មៅទ្គល្យាយន

(បា. សារីបុត្ត និង មោគ្គល្លាន)

ក្នុងសម័យនោះឯង នៅក្នុងនគររាជគ្រឹះនោះ មានបរិព្វាជក (បា. បរិព្វាជក) ម្នាក់ឈ្មោះសញ្ជយមានសិស្ស ២៥០ នាក់ ក្នុងបណ្ដាសិស្សទាំងនោះមានព្រាហ្មណ៍ទាំងពីរនាក់ឈ្មោះ ឧបតិស្ស សារីបុត្រ ១ (បា. ឧបតិស្ស សារីបុត្ត) និងកោលិត មៅទ្គល្យាយន ១ (បា. មោគ្គល្លាន) ព្រាហ្មណ៍ទាំង ២ នាក់នេះ បានប្ដេជ្ញានឹងគ្នា ថាបើម្នាក់រកផ្លូវប្រតិបត្តិដ៏ប្រសើរឃើញមុន ត្រូវឲ្យដំណឹងដល់ម្នាក់ លុះក្នុងថ្ងៃមួយនោះ សារីបុត្របានឃើញស្ថវិរ អស្វជិត (បា. អស្សជិ) កំពុងតែនិមន្តបិណ្ឌបាត្រ ក៏រីករាយចិត្តនឹងកិរិយា

សុភាពរម្យទមនៃបព្វជិតនោះ សារីបុត្រក៏សួរហើយបានដឹងថា ខ្លួនបព្វជិតនោះជាសិស្សរបស់ព្រះពុទ្ធ ដើម្បីជាគំរូនៃព្រះធម៌នោះ អស្សជិត បានសូត្រគាថាមួយបទថា ៖

យេធម្មា ហេតុប្រភវា ហេតុំ តេសំ តថា
គតោ អាហ តេសញ្ច យោ និរោធ ឯវំវាទី
មហាស្រមណះ

(មរ ខ្សែ ៣ ទំព័រ ៦២)

លុះចប់គាថាបទនេះ សារីបុត្រក៏បានព្រះនេត្រទិព្វវេលានោះ ហើយត្រឡប់មកឲ្យដំណឹងដល់មោគ្គល្យាយនវិញ ទាំង ២ នាក់ ក៏បបួលគ្នាទៅចូលជាសាវក នៃព្រះពុទ្ធ ឯបរិព្រាជកទាំង ២៥០ ក៏តាមទៅដែរ ហើយបានទទួលបព្វជ្ជាឧបសម្បទទាំងអស់គ្នា ។

## អំពីពុទ្ធដំណើរទៅកាន់កបិលវត្ថុ

ព្រះបាទសុទ្ធោទន នៅវេលាដែលបានជ្រាបថាព្រះពុទ្ធគង់នៅក្នុងព្រៃវេឡុវ័ន ក្នុងក្រុងរាជគ្រឹះ ក៏ចាត់អាមាត្យម្នាក់ឲ្យទៅនិមន្តមកលេង ប៉ុន្តែរាជអាមាត្យនេះ នៅវេលាដែលបានស្តាប់ ពុទ្ធោវាទ ក៏បានដល់នូវអរហត្តផលទៅ ភ្លេចគិតដល់កិច្ចធុរៈរបស់ខ្លួន រាជបម្រើ ៨ នាក់ក្រោយទៀត ក៏ធ្វើដូចគ្នា ឯរាជបម្រើទី ១០ គឺកាលឧទាយិន បម្រើនេះទៅដល់ក្រុងរាជគ្រឹះ នៅវេលាដែលព្រះអង្គចេញពីស្រុកពេណារេសមកបាន ៤ ខែ ហើយ

រដូវរងា (ហេមន្ត) ក៏ផុតទៅហើយ ចូលរដូវក្ដៅវិញ នៅថ្ងៃពេញបូណ៌មីខែផល្គុន ឧទាយិនដែលដល់អរហត្តផលដូចបម្រើឯទៀតមុន ៗ តែមិនបានភ្លេចកិច្ចរបស់ខ្លួន ក៏ចូលទៅគាល់ព្រះអង្គហើយនិយាយសរសើរសេចក្ដីសប្បាយក្នុងដំណើរ លុះព្រះអង្គទ្រង់សួរអំពីសេចក្ដីប្រាថ្នាទៅ ទើបឧទាយិនយកសេចក្ដីដែលព្រះបាទសុទ្ធោទន ឲ្យក្រាបទូលនិមន្តព្រះអង្គ ហើយព្រះសម្ពុទ្ធក៏ទទួលនិមន្តក្នុងវេលានោះ ព្រះអង្គក៏ទ្រង់ពុទ្ធដំណើរទៅ មួយអន្លើនឹងព្រះអរហន្តទាំង ២.០០០ អង្គក្នុង ១ ថ្ងៃបានចម្ងាយ ១ យោជន៍ ដើម្បីឲ្យបានដល់ក្រុងកបិលវត្ថុក្នុងរវាង ២ ខែ ឧទាយិនហោះទៅឯក្រុងកបិលវត្ថុរាល់ថ្ងៃដោយអាកាសជាមុន ហើយថ្វាយដំណឹងដល់ព្រះបាទសុទ្ធោទន អំពីសេចក្ដីចម្រើន ក្នុងពុទ្ធដំណើរ ហើយយកចង្ហាន់ ពីព្រះរាជបិតាមកថ្វាយព្រះអង្គ ៗ

លុះដល់ក្រុងកបិលវត្ថុ ព្រះអង្គបានប្រថាប់នៅក្នុងនិគ្រោធារាមមួយអន្លើនឹងពុទ្ធបរិស័ទទាំងអស់ ព្រះអង្គសម្ដែងសេចក្ដីអស្ចារ្យ ១ ដើម្បីបន្ទន់នូវសេចក្ដីមានះរឹងរូសនៃពួកសាក្យ ហើយឲ្យគេលំទោនចំពោះព្រះអង្គ លុះព្រឹកស្អែកឡើងព្រះអង្គយាងចូលក្នុងទីក្រុង ហើយបិណ្ឌបាតចង្ហាន់ ពីផ្ទះមួយទៅផ្ទះមួយ ខ្មាសអស់ព្រះញាតិព្រះវង្សទាំងឡាយក្នុងវេលានោះ ព្រះរាជបិតាក៏រត់ទៅឯព្រះអង្គហើយនិមន្តទៅឆាន់ក្នុងព្រះដំណាក់លុះព្រះអង្គឆាន់រួចហើយ ស្ត្រីទាំងអស់នៅក្នុងព្រះដំណាក់ ក៏ចេញមកថ្វាយបង្គំ សល់តែព្រះអគ្គមហេសីព្រះអង្គមិនបានចេញមក តែវេលា

នោះព្រះពុទ្ធអង្គទ្រង់យាងចូល ដោយមានអគ្គសាវក ២ អង្គ និង មហា-ក្សត្រិយ៍ជូនចូលទៅផង ។

# អំពីបំបួសនន្ទ និង រាហុល

លុះព្រឹកស្អែកឡើង គេបានរៀបអាពាហ៍ពិពាហ៍នន្ទជាព្រះរាជបុត្រនៃមហាក្សត្រិយ៍ ព្រះសម្ពុទ្ធក៏យាងចូលទៅកាន់ទីនោះ លុះព្រះអង្គត្រឡប់មកវិញ ប្រទានបាត្រទៅនន្ទកាន់ ហើយបន្ទំឲ្យបួសនៅទីនោះ ទៅវេលាដែលព្រះអង្គយាងទៅដល់កបិលវត្ថុបាន ៣ ថ្ងៃ ។

លុះថ្ងៃទី ៧ រាហុលជាពុទ្ធបុត្រ ក៏បានទៅតាមព្រះសាស្តា ទៅដោយព្រះមាតាបញ្ចេះបង្គាប់ ដើម្បីសូមយកមត៌ក ហើយព្រះសារីបុត្រក៏បំបួសនៅវេលានោះទៀត ឯព្រះមហាក្សត្រិយ៍តូចព្រះរាជហឫទ័យណាស់ ហើយសូមសេចក្តីប្តេជ្ញាមួយពីព្រះអង្គថា តទៅមុខទៅ បុគ្គលឯណា ដែលមិនបានសេចក្តីអនុញ្ញាតពីឪពុកម្តាយ មិនបំបួសបុគ្គលនោះមិនបាន ។

ព្រះអនាវរណញ្ញាណទ្រង់ទូន្មានព្រះវររាជបិតា បានដល់អនាគាមិផល គឺផលទី ៣ ហើយក៏យាងត្រឡប់ទៅក្រុងរាជគ្រឹះវិញ ។

# ពុទ្ធដំណើរទៅកាន់ក្រុងស្រាវត្ថី

## ទទួលប្រគេនព្រះវិហារជេតវន

ក្នុងសម័យមួយនោះ មានមហាពាណិជម្នាក់នៅក្រុងស្រាវត្ថីឈ្មោះអនាថបិណ្ឌិក ទៅក្រុងរាជគ្រឹះ ហើយបានទទួលប្រោសពីព្រះអង្គថា ព្រះ

អង្គ និងយាងចូលមកក្រុងស្រាវស្តី អ្នកជំនួញធំនេះ បានក្រាលកម្រាល ពេញតាមផ្លូវ ដែលព្រះអង្គត្រូវយាងចូល បានទិញសួនមួយកន្លែង ហៅថាជេតវនអស់ប្រាក់អស់មាសចំនួន ១៨ កោដិ ហើយបានសង់គេហដ្ឋានជាច្រើនយ៉ាងល្អ ៗ សម្រាប់ព្រះសាស្តាចារ្យ និងពុទ្ធបរិស័ទអស់តម្លៃស្មើនឹងតម្លៃសួនទាំងមូលស្រេចហើយ ទើបទៅនិមន្តព្រះអង្គឱ្យយាងចូលមក ។

សម្តេចព្រះអនន្តញាណ យាងចូលទៅកាន់ក្រុងស្រាវស្តីមួយអន្លើនឹងភិក្ខុជាច្រើន ហើយចូលទៅជាគណ្តាប់អណ្តោយនៅក្នុងជេតវន ដែលអនាថបណ្ឌិកវេរប្រគេនដល់ព្រះសង្ឃក្នុងបច្ចុប្បន្ន និង អនាគត បុណ្យឆ្លងព្រះវិហារនោះកំណត់ ៩ ខែ អស់សោហ៊ុយចំនួន ១៨ កោដិ គិតទៅជេតវននេះ តម្លៃទាំងអស់ ៥៤ កោដិ ដែលអ្នកម្ចាស់ទានបានចេញប្រាក់កសាងទីនោះ ហើយដែលជាលំនៅឆន្ទគាររបស់ព្រះពុទ្ធអង្គរហូតលុះដល់បរិនិព្វាន ។

តាំងពីវេលានោះ ដកបដល់មកពុទ្ធជំនាន់ក្រោយ ដែលផុតត្រឹមបរិនិព្វាណ នោះរឿងគ្មានសម្តែងក្នុងគម្ពីរណាមួយឱ្យជាក់ជារឿងពិតតគ្នាឡើយ ជាការដួនល្ហម គួរតែសម្គាល់ក្នុងសូត្រធំ ៗ មិនទាំងបាប់រៀបរឿងជាមាតិកាតាមមុនក្រោយឡើយ ប៉ុន្តែបើនឹងប្រមូលឈ្មោះក្រុងដែលព្រះអង្គតែងយាងទៅនោះបាន គឺ រាជគ្រឹះ ១ ស្រាវស្តី ១ វេសាលី ១ និងកន្លែងឯទៀតផ្សេង ៗ ។

# អំពីរឿងរ៉ាវនៅក្រុងរាជគ្រឹះ

អំពីព្រះឥន្ទ្រចូលគាល់(១) ព្រះអង្គគង់នៅគុហាមួយហៅថា ឥន្ទ្រសាលគុហា (បា.ឥន្ទសាលគុហា) នៅលើភ្នំវេទិយកជាខាងកើតក្រុងរាជគ្រឹះ វេលានោះព្រះឥន្ទ្រចូលទៅគាល់មួយអន្លើ ដោយត្រ័យស្ត្រិង្សទេវបុត្រជាច្រើន បានឲ្យគន្ធព្វបញ្ចសិខ ទៅជាមុនកាន់ពិណមួយដេញ ហើយច្រៀងសម្រួលព្រះហឫទ័យព្រះបរមសាស្ត្រាចារ្យ រួចពីនោះមក ព្រះឥន្ទ្របានទូលសួរព្រះអង្គជាច្រើនស្ថាន អំពីធម៌ដែលជាគ្រឿងប្រទូស្តដល់ផ្លូវអរហត្ត និងកិច្ចដែលនាំឲ្យជៀសវាងពីធម៌នេះបាន ។

អំពីបិណ្ឌបាតធូលី (បំសុប្រទាន)(២) កាលនោះ ព្រះបរមលោកនាថ ទ្រង់យាងបិណ្ឌបាតតាមផ្លូវធំនៅក្រុងរាជគ្រឹះ ហើយពុទ្ធដំណើរទៅប្រះក្មេង ៗ ពីរនាក់ កំពុងតែលេងដីធូលី ក្មេងម្នាក់នោះនិយាយថា " អញយកម្សៅទៅឲ្យព្រះ " ហើយដាក់ដី ១ កំបង់ទៅក្នុងបាត្រព្រះអង្គហើយថា ព្រាថ្នាសូមឲ្យបានជាស្តេច ១ ធំ ព្រះពុទ្ធអង្គទ្រង់ទំនាយថា ក្មេងនោះនឹងបានជាស្តេចអសោកនោះឯង ។

អំពីការស្កាត់ស្នាក់នៃទេវទត្ត(៣) ទេវទត្តធ្វើអាការបំណងដល់ជីវិ

---

១- គោលដើមសក្កបញ្ហាសូត្រក្នុងសៀវភៅ ខ.ហេ១ ២១, ទី. ទំព័រ ៣៩៤; ហ្វាហ៊ាន ទំព័រ ៨០; ហ៊ិនឆ្យូង វ៉ុល ២ ទំព័រ ៥៨ ។

២- ទីរ ទំព័រ ៣៦៦ និង ៤០២; ហ្វូសេ វ៉ុល ១ ទំព័រ ៥៣០ ។

៣- សៀវភៅស្លូងហការទី ទំព័រ ៣១៥ មាន[illegible] អ្នកហ្វូគុរិស្ម ។

ព្រះបរមគ្រូ ៣ ដង គឺដំបូងនោះបានជួលចោរជាច្រើនរូបឲ្យសម្លាប់ព្រះអង្គ រួចពីនោះទៅប្រមៀលដុំថ្ម ១ ដុំធំមកលើព្រះអង្គ ហើយក្រោយទៀត លែងដំរីមួយឈ្មោះនាឡាគិរីឲ្យទៅព្រេចព្រះអង្គ ដោយបានបង្អកស្រាដំរីនោះជាមុន អាការបំណងទាំង ៣ នេះ គ្មានបានសម្រេចមួយសោះ ចោរទាំងអស់ក៏បាក់បបខ្ទបខ្ទាច ចុះចូលដោយអំណាចព្រះមហាករុណានៃព្រះបរមគ្រូ ថ្មនោះគ្រាន់តែប៉ះត្រូវបស់បន្តិចនៅព្រះបាទហើយ ឯដំរីដែលកាចនោះ ព្រះអង្គគ្រាន់តែយកព្រះហស្តទៅស្ទាបក្បាលបន្តិចក៏ត្រឡប់ទៅជាស្លូត ហើយស្តាប់បង្គាប់ព្រះអង្គវិញ ។

## រឿងរ៉ាវនៅស្រាវស្តី

អំពីកិច្ចមាយាចិញ្ចាមាណវិកា សុន្ទរី(១) ឯពួកតិរិថិក ដើម្បីបង្ខូចព្រះពុទ្ធក៏បញ្ចោះស្ត្រីក្រមុំម្នាក់ឈ្មោះចិញ្ចាឲ្យពោលក្លែងថា ៖ បានទៅដេកជាមួយនឹងព្រះសក្យមុនីក្នុងវេតវ័ន ហើយថា ដល់មកខាងក្រោយដែលដេកនៅជាមួយនឹងព្រះសក្យមុនីនោះ ក៏បានមានទាំងគភ៌ផង នាងចិញ្ចាបានយកដុំឈើនិងបង្វេចកំណាត់សំពត់ យកមកបង់ពោះនោះ ដើម្បីឲ្យឃើញជាតាងនៃពាក្យដែលពោលបង្កាច់នោះ ប៉ុន្តែលុះកំពុងតែពោលទ្រគោះឲ្យព្រះពុទ្ធនៅកណ្ដាលមហាសន្និបាតដូច្នេះ មានទេវបុត្រ ៤ អង្គនិម្មិតខ្លួនជាកណ្តុរចូលទៅកាត់ខ្សែ ដែលតែសំពត់និងដុំឈើនោះ ធ្លាក់ចុះមកដី

---

១- សៀវភៅហ្វេអែរ ក្នុងឆ្នាំ ១៨៦៤ ទី ១ ទំព័រ ២១០ និង ឆ្នាំ ១៨៩៧ , វៃមាល្ស អារ៉ែល ។

វេលានោះគេបានដេញបណ្ដេញនាងចិញ្ចាឲ្យចេញទៅក្រៅ ហើយធ្លាក់ចុះទៅក្នុងនរកឈ្មោះអវិចី តាមសេចក្ដីប្រែមួយផ្សេងទៀតថា ពួកតិរ្ថិកបានឲ្យសម្លាប់នាងចិញ្ចាយកខ្មោចទៅចោល នៅប្របគន្ធកុដិព្រះអង្គ ហើយនាំគ្នាចោទប្រកាន់ព្រះអង្គថាជាអ្នកប្រព្រឹត្តបទមនុស្សឃាត ប៉ុន្តែសេចក្ដីពិតក៏លេចឡើងវេលានោះមួយរំពេច ហើយពួកនេះត្រូវទទួលទោសនៅមុខមហាជន ។

សេចក្ដីអស្ចារ្យធំ(១) ដើម្បីនឹងផ្ចាញ់ពួកតិរ្ថិក ព្រះពុទ្ធអង្គបានសម្ដែងនូវសេចក្ដីអស្ចារ្យមួយប្របក្រុងស្រាវស្តី ចំពោះព្រះភក្ត្រព្រះបាទប្រសេនជិត (មហាប្បាដិហារ្យ) ឬ សេចក្ដីអស្ចារ្យជាគូ (យមកប្បាដិហារ្យ) បដិហារនេះមានសណ្ឋាន ២ យ៉ាង ១ គឺព្រះពុទ្ធអង្គយាងកណ្ដាលអាកាស បញ្ចេញអណ្ដាតភ្លើង ២ ចំណែកព្រះអង្គខាងលើ ហើយបញ្ចេញខ្សែទឹកត្រជាក់ពីចំណែក ព្រះអង្គខាងក្រោម ហើយចេះតែផ្លាស់ប្ដូរឡើងចុះតទៅ ២ គឺព្រះអង្គបែងភាគព្រះអង្គជាអនេករាប់មិនអស់ ។

រឿងសេចក្ដីចុះចូលនៃអង្គុលិមារ(២) នៅប្របក្រុងស្រាវស្តីមានចោរម្នាក់ឈានក្លាបានសម្លាប់មនុស្សដំណើរជាច្រើន ហើយគាត់យកម្រាមដៃមកចងធ្វើជាកម្រង ចោរនោះឈ្មោះថា អង្គុលិមារ ព្រះពិជិតមារក៏យាងទៅកាន់កន្លែងដែលចោរនោះនៅ ។

---

១- ទិវ. ភាគ ពី ហ្វូស ហ្សង់វីយេ - ហ្វេវ្រីយេ ១៩០៩ ។

២- មជ្ឈិមនិកាយទី ២ ទំព័រ ២៣ ជាតកលេខ ៤៦៩ ។

លុះអង្គុលិមាលបានឃើញព្រះអង្គក៏ដេញតាមជាប់ពីក្រោយ ប៉ុន្តែមិនអាចនឹងទាន់ព្រះអង្គបានឡើយ លុះព្រះបរមគ្រូឈប់ហើយសម្ដែងធម៌ជូនទៅ អង្គុលិមាល ក៏បានឧបសម្បទ នៅវេលាដែលចប់ធម៌ទេសនា ។

## អំពីរឿងរ៉ាវនៅវេសាលី

អំពីដង្វាយរបស់ស្វា(១) ក្នុងសម័យមួយនោះ ព្រះអង្គគង់នៅវេសាលី ហើយមានស្វា ១ យកបាត្រព្រះអង្គឡើងទៅលើដើមត្នោត (តាល) បំពេញដោយទឹកត្នោត (មធុ) ក្នុងបាត្រនេះ យកមកថ្វាយព្រះអង្គ ។ ក៏បានទទួលយក ឯស្វានោះ កាលណាបើបានធ្វើកិច្ចយ៉ាងល្អដូច្នេះហើយ ក៏ដួនជាធ្លាក់ក្នុងទឹកត្រពាំងស្លាប់ទៅ រួចពីនោះក៏ទៅកើតជាកូនព្រាហ្មណ៍មួយ ដោយផលនៃពុទ្ធបូជា ។

## អំពីរឿងរ៉ាវនៅដំបន់ផ្សេង ៗ

អំពីសម្ដែងធម៌ទេសនានៅត្រៃត្រឹង្ស(២) ព្រះបរមគ្រូលោកទ្រង់ពុទ្ធដំណើរទៅកាន់ឋានត្រៃត្រឹង្ស នាទីដែលព្រះមាតាទៅយកកំណើតជាទេវបុត្រ ព្រះអង្គបានជូនទានធម៌ហើយត្រឡប់វិលមកក្នុងមនុស្សលោកវិញ ព្រះអង្គចុះមកប្រែបសង្កស្សនគរ ដោយជណ្ដើរ ៣ ដែលព្រហ្មហែហាខាងស្ដាំ ហើយព្រះឥន្ទ្រហែហាខាងឆ្វេង លុះព្រះអង្គចុះដល់ដីមានព្រះបាទឧទេយនជា

---

១- ហ្វូសេទី ១ ទំព័រ ៥១២ ។

២- ហ្វូសេ ទំព័រ ៤៨៣ និង ៥៣៧ ។

ក្សត្រិយ៍គ្រងរាជ្យនៅក្រុងកោសម្ពីចាំទទួល ក្សត្រិយ៍នេះនៅវេលាដែលបាត់ព្រះអង្គ ក៏អផ្សុកក្នុងព្រះហឫទ័យពេកណាស់ បានឲ្យសាងព្រះពុទ្ធរូបមួយអង្គដើម្បីថ្វាយបង្គំ ។

អំពីសេចក្ដីចុះចាញ់នៃនាគឈ្មោះឯលាបត្រ (១) មើលទិវ្យាវទាន ទំព័រ ៦១ មហាវស្តុ កណ្ឌទី ៣ ទំព័រ ៣៨៣ ហ្វូនសាងទី ១ ទំព័រ ១៥២ (ល) ហ្វូសេ កណ្ឌទី ១ ទំព័រ ៥០៦ រឿងនេះកើតមាននៅក្រុងពារាណសី ឬ នៅគន្ធារ ។

អំពីសេចក្ដីចុះចាញ់នៃនាគអបលាល(២) នាគអបលាលនៅក្នុងទន្លេសុភវស្តុ (ស្វាត) ក្នុងឧទ្យានដើម្បីទឹងស្រោចស្រង់ដល់បណ្ដាជន ដែលមានស្រូវអង្ករយ៉ាងដោយនាគនេះបំផ្លាញជាច្រើន នោះព្រះពិជិតមារទ្រង់ពុទ្ធដំណើរទៅកាន់កន្លែងនោះ មួយអន្លើនឹងវជ្របាណិ វជ្របាណិក៏វាយលើកំពូលភ្នំនឹងវជ្ររបស់ខ្លួន នាគនោះក៏ភ័យដោយឮសូរសព្ទសន្ធឹកហើយចេញមកសូមចុះចាញ់ព្រះអង្គ ព្រះលោកុត្តមាចារ្យក៏ទ្រង់ហាមនាគនោះមិនឲ្យបង្កិនបំផ្លាញតទៅទៀតឡើយ តែព្រះអង្គបានអនុញ្ញាតទុកឲ្យនាគភាគ ១ ក្នុងភាគ ១២ ដើម្បីបង្ការនូវសេចក្ដីស្រេកឃ្លាននោះ ។

---

១- ឯលាបត្រ បើប្រែតាមអក្សរបាលី (ស្លឹកក្រវាញ) (ឯលា) ប៉ុន្តែបើតាមពិតនោះគឺជាបែបភាសាដែលចេញពី ប្រាក្រឹត "ឯរាបត" ឯលាបត្រ ។

២- ហ្វូសេ ទី ១ ទំព័រ ៥៤៤ ។

អំពីសេចក្តីចុះចូលនៃយក្សអាដវិក (១) ព្រះបាទអាដវីបានទទួលប្តេជ្ញា នឹងយក្សអាដវិកដែលមានទីលំនៅ ៗ ដើមពោធិ៍ ១ ថានឹងយកមនុស្សទៅ ដាក់ជាសួយក្នុង ១ ថ្ងៃមនុស្សម្នាក់ ឲ្យយក្សនោះស៊ី លុះដកប ១២ ឆ្នាំ ក៏ នៅសល់តែបុត្រដំទង់នៃស្តេច ១ ទៅថ្ងៃដែលត្រូវនាំបុត្រនោះ ទៅប្រគល់ ឲ្យយក្ស នោះព្រះសព្វញ្ញុព្រះគង់ក្នុងជេតវន ចម្ងាយ ៣០ យោជន៍ ពីកន្លែងអាដវិក ក៏យាងទៅដល់ទីនោះ ហើយចូលទៅគង់នៅលើកន្លែង យក្សនោះ យក្សនោះដេញព្រះអង្គល្បងលមើល តែមិនបានដូចសេចក្តី ប្រាថ្នា រួចពីនោះមកក៏បានសួរប្រស្នាទៅព្រះអង្គ ហើយព្រះបរមគ្រូក៏បាន ឆ្លើយដោះសារដោយក្បោះក្បាយជ្រះស្រឡះពេក ឯយក្សអ្នកស៊ីមនុស្ស នោះទទួលចុះចូលព្រះអង្គ ហើយក៏ថ្វាយរាជកុមារនោះមកព្រះអង្គ ព្រះ អង្គក៏ប្រគល់ទៅឱ្យស្តេចបិតាវិញ ។

អំពីបក្សពួកសង្ឃនៅក្រុងកោសម្ពី(២) អស់ទាំងព្រះសង្ឃនៅឃោ-សិតារាម ក្នុងក្រុងកោសម្ពី ដោយឥតហេតុអ្វីជាគប្ប ក៏ឈ្លោះប្រកែកគ្នា ហើយបែកគ្នាជា ២ ពួក ដោយឈ្លោះប្រកែកនោះជាការហួសប្រមាណ ណាស់ ព្រះបរមគ្រូក៏យាងចេញពីទីនោះចូលទៅក្នុងព្រៃ បាលិលេយ្យក ទៅនៅទីនោះមានដំរីមួយធំ ដែលស្លូនគេទីស្គាល់ ដូចជាព្រះអង្គដែរ ទៅ បម្រើព្រះអង្គ រួចពីនោះមក ព្រះអង្គយាងចូលទៅក្នុងជេតវ័ន ឯចំណែក

---

១- ហ្វូសេ ទី ១ ទំព័រ ៥០៧ ។

២- វិន័យ. មហាវគ្គ ។

ឧបាសក ឧបាសិកានៅក្រុងកោសម្ពី កើតសេចក្ដីទោមនស្ស ដោយព្រះអង្គយាងចេញបាត់ ក៏លែងធ្វើទានដល់លោកសង្ឃដែលឈ្លោះគ្នានោះសោះហើយបង្ខំឲ្យសង្ឃទាំងនោះទៅតាមគេព្រះបរមសាស្ដាចារ្យ ហើយឲ្យជានឹងគ្នាវិញ នៅចំពោះព្រះភក្ត្រព្រះអង្គ ។

រឿងរ៉ាវដែលឃើញមាននៅស្រុកសៀម និងស្រុកខ្មែរគ្រង់តន្ត្រាយដ៏រ និងតន្ត្រាយស្វានោះ ហាក់ដូចជាបញ្ចូលគ្នាក្នុងរឿងរ៉ាវទាំង ២ នៅវៃសាលី និងនៅបាលិលេយ្យក ។

# ភាគទី ៤

# អំពីបរិនិព្វាន

ពុទ្ធដំណើរ ជាន់ក្រោយបំផុតនោះ ពេលដែលចេញទៅពីក្រុងរាជគ្រឹះហើយផុតត្រឹមកុសិនគរ (កុសិនារា) ជាទីដែលព្រះអង្គចូល បរិនិព្វាន ទីកន្លែងដែលព្រះអង្គឈប់នោះ តាមគម្ពីរមហាបរិនិព្វានសូត្រថា បាដលិគ្រាម ១ វៃសាលី ១ និង បាវា ១ ។

នៅវេលាដែលពុទ្ធដំណើរទៅដល់បាដលិគ្រាម ព្រះអង្គបានឃើញនាម៉ឺនធំ ២ នាក់ នៅក្នុងដែនមគធៈ បានសាងបន្ទាយ ១ ដើម្បីទប់ទល់ពួកវជ្ជិ ព្រះអង្គទ្រង់ទំនាយថាក្រុងនេះអំណើះទៅមុខនឹង បានសម្បូរហើយមានឫទ្ធានុភាព នាម៉ឺនទាំង ២ នាក់នោះ បាននិមន្តព្រះអង្គឆាន់ ហើយលុះនាំព្រះអង្គចេញទៅវិញ បានទូលព្រះអង្គថា ទ្វារដែលព្រះអង្គចេញនោះ យើងនឹងឲ្យឈ្មោះហៅថា គោតមទ្វារ ឯកន្លែងដែល

ព្រះអង្គឆ្លងទន្លេគង់នោះទីងឲ្យឈ្មោះថា គោតមតិត្ថ ក្នុងសម័យនោះទឹកទន្លេជន់ខ្លាំង បណ្ដាជនកាល់គ្នាក៏ខ្វល់ខ្វាយរកទូកនិងក្បូន ឯព្រះអង្គមួយអរិទ្ធិនិងពួកបរិស័ទក៏ស្រាប់តែដល់ទៅត្រើយទន្លេខាងម្ខាង តែមួយប្រេចភ្លែតក្លាយជាទីអស្ចារ្យពេកណាស់ ។

លុះដល់ក្រុងវេសាលីហើយ ព្រះអង្គចូលទៅអាស្រ័យក្នុងព្រៃស្វាយនៃនាងអម្រពាលិ ជាស្រីផ្កាមាស ហើយនាងនោះមកថ្វាយបង្គំព្រះអង្គនិមន្តទៅឆាន់ឯផ្ទះនាង វេលានោះព្រះអង្គបានទទួល ឯពួកលិច្ឆវីមកដល់ក៏អន់ចិត្ត ដោយព្រះអង្គមិនទទួលនិមន្ត ព្រះអង្គយាងទៅឆាន់ឯផ្ទះនាងអម្រពាលិ ហើយបានទទួលផ្ទះ ១ ដែលនាងនេះថ្វាយ ។

លុះដល់រដូវវស្សា (វស្សា) ព្រះអង្គនិមន្តទៅចាំវស្សា ឯស្រុកពេលុវ ឯភិក្ខុសង្ឃទាំងឡាយឯទៀត ក៏បែកគ្នាទៅដោយពួក ១ នៅក្បែរក្រុងវេសាលីនៅទីនោះហើយដែលព្រះអង្គទ្រង់អាពាធជាទម្ងន់ តែព្រះអង្គបានឈ្នះរោគនោះដោយឫទ្ធិបុណ្យព្រះអង្គ ។ អានន្ទយកសេចក្ដីក្រាបទូលព្រះអង្គថា អានន្ទបានជាមិនសូវព្រួយដោយគិតឃើញថា ព្រះបរមគ្រូនឹងមិនបរិនិព្វានមុនដែលបញ្ញត្តិសិក្ខាវិន័យដល់សង្ឃឡើយ វេលានោះព្រះសម្មាសម្ពុទ្ធតបទៅអានន្ទវិញថា ៖

ព្រះហេតុអ្វី អានន្ទក៏បានសង្ឃទាំងពួងចាំទទួលបញ្ញត្តិពីតថាគតទៀត តថាគត មិនបានសម្ដែងធម៌ឯណាថាជាធម៌ស្ងាត់កំបាំងទុកប្រាប់តែបុគ្គលម្នាក់ៗ ឬធម៌ឯណាដែលត្រូវផ្សាយសាធារណៈនោះឡើយ តថាគត

មិនដែលដាក់ អាថ្វាលើសិក្ខាបទណាមួយទេ លើកទុកថា ជាធំជាងធម៌ឯណាមួយឡើយ បើមានអ្នកណាគេគិតថា “ អញនឹងកាន់កាប់នូវសង្ឃទាំងអស់ ” ឬថា “ សង្ឃទាំងអស់ស្រេចលើអញ ” អ្នកនោះឯងហើយអានន្ទ គប្បីនឹងមានបញ្ញត្តិដល់គេបាន ឯតថាគតមិនគិតយ៉ាងដូច្នោះទេ អំពីពួកសង្ឃនោះ ចុះហេតុអ្វីក៏ចាំឲ្យតថាគតបញ្ញត្តទៀត តថាគតជរាហើយអានន្ទ តថាគតអាយុច្រើនណាស់ហើយតថាគតបានបំពេញពុទ្ធកិច្ចដរាបមក លុះដល់កំណត់ពេលតថាគត ឥឡូវនេះតថាគតអាយុ ៨០ ឆ្នាំហើយ នែអានន្ទ រទេះដែលចាស់ហើយដែលគេប្រើការដោយប្រយ័ត្នថ្នាក់ថ្នមមានឧបមាយ៉ាងណា ឯរូបអង្គតថាគតនេះដែលនឹងផ្ទប់ផ្ទល់នៅបាន ដោយអំណាចប្រយ័ត្នថ្នាក់ថ្នម មានឧបមេយ្យដូច្នោះឯង លុះតែកាលណាចិត្តតថាគតលះបង់នូវខន្ធបញ្ចកចេញ កាលណាវេទនាបាត់ពីតថាគតនៅក្នុងវេលានោះហើយដែល តថាគត ទៅក្នុងឈានដែលគ្មានខន្ធបញ្ចក វេលានោះហើយ អានន្ទរូបអង្គ តថាគតបានដល់នូវសេចក្ដីសុខ ។

ហេតុនេះ ម្នាលអានន្ទ ត្រូវអ្នកឯងជាប្រទីបខ្លួនឯង ត្រូវអ្នកឯងទីពឹងខ្លួនឯង គ្មានអ្នកណាក្រៅពីអ្នកទៀតទេ គោរពអ្នកមានធម៌ជាប្រទីប គោរពមានធម៌ជាទីពឹងគ្មានអ្វីក្រៅពីនេះទៀតទេ ឯបុគ្គលទាំងឡាយឯណានោះតថាគតនៅក្ដីឥតអំពីតថាគតក្ដី ដែលមានប្រទីបតែមួយ ដែលមានទីពឹងតែមួយ គឺខ្លួនឯងរាល់គ្នានិងធម៌ បុគ្គលទាំងនោះហើយ ដែលនឹង

ដល់ទៅទីបំផុត ប្រសិនបើមានប្រាថ្នានឹងចម្រើនឡើង ។

តពីនោះមកព្រះអានន្ទញាណទ្រង់ទៅគង់ឯចាបាលចេតិយប្របស្រុកវៃសាលី នៅទីនោះហើយ ដែលអានន្ទប្រព្រឹត្តសេចក្តីកំហុសមួយដែលតទៅមុខនឹងកើតជារឿងធំ ១ ឡើង ដែលពិរុទ្ធចោទលើ ។ ព្រះបរមសាស្តាចារ្យ ទ្រង់មានបន្ទូលប្រាប់អានន្ទថាដូច្នេះ បុគ្គលឯណាដែលមានបានឥទ្ធិបាទទាំង ៤ គឺ ឆន្ទិទ្ធិបាទ ១, វិរិយិទ្ធិបាទ ១, ចិត្តិទ្ធិបាទ ១, វិមំសិទ្ធិបាទ ១, បុគ្គលនោះអាចនឹងនៅក្នុងលោកនេះបានកំណត់ ១ កល្បទាំងមូល ឬ ដែលសល់ពេលប៉ុន្មាន និងគ្រប់ ១ កល្ប ឯឥទ្ធិបាទទាំងនេះ តថាគតឯងមានន័យប៉ុណ្ណោះជាការក្តីច្បាស់ណាស់ទៅហើយ ប៉ុន្តែអានន្ទមិនបានយល់ឡើយហើយក៏ស្ងៀមទៅ ។

លុះព្រះអង្គនៅស្ងាត់តែមួយអង្គឯង មារក៏ចូលមកជិតហើយនិមន្តព្រះអង្គឲ្យចូលនិព្វាណថា ត្បិតសាវ័កមានរបៀបរៀបរយហើយ វេលានោះព្រះសព្វញ្ញុតបទៅវិញថា ម្នាលមារ ចូរឯងកំណត់ចុះ ៣ ខែទៀត តថាគតនឹងបរិនិព្វានហើយ ហេតុដូច្នេះបានជាព្រះអង្គក៏លះបង់អាយុសង្ខារ ក្នុងវេលានោះផែនដីក៏ញាប់ញ័រ អានន្ទក៏សួរហេតុ ដែលផែនដីញាប់ញ័រនោះហើយ បានដឹងនូវហេតុដែលកន្លងទៅហើយ អានន្ទគិតនឹងទៅសូមព្រះអង្គឲ្យតាំងនៅដរាបលុះអស់ ១ កល្ប ប៉ុន្តែជ្រុលហួសពេលទៅហើយព្រះបរមគ្រូបានចេញវាចាជាស្រេចមិនត្រឡប់ប្រែវិញឡើយ ។

លុះព្រះអង្គទៅគង់នៅព្រៃមហាវន ក្នុងកុដាគារសាលា ព្រះសម្ពុទ្ធ

ទ្រង់ឲ្យភិក្ខុសង្ឃទាំងអស់ ដែលនៅក្នុងស្រុកវេសាលី វេលានោះឲ្យទៅប្រជុំនៅមហាវន ហើយព្រះអង្គក៏ប្រកាសតាំងចិត្តឲ្យក្លាហានទាំងអស់គ្នា ក្នុងព្រឹកមួយនោះព្រះអង្គយាងបិណ្ឌបាត ហើយលុះឆាន់ចង្ហាន់ស្រេចព្រះអង្គក៏ឈរសម្លឹងទីក្រុងហើយបើកព្រះឱស្ឋថា អានន្ទ ! តថាគតឃើញវេសាលីម្តងនេះជាក្រោយបំផុតហើយ ចូរមកយើងទាំងទៅឯភណ្ឌគ្រាមវិញ ។

លុះពុទ្ធដំណើរទៅដល់បាវា ព្រះអង្គចូលទៅអាស្រ័យក្នុងព្រៃស្វាយរបស់ជាងដែកម្នាក់ឈ្មោះ ចុន្ទ ចុន្ទក៏បានរៀបចង្ហាន់ធ្វើដោយសុករមទ្ទវថ្វាយ គឺសាច់ជ្រូកចញ្ចាំ ឬ ផ្សិត ជា ចង្ហាន់នេះដែលព្រះអង្គឆាន់ហើយ ហើយបណ្តាលឲ្យកើតព្រះរោគមួយឈឺចាប់ជាខ្លាំង ។

តែវេលានោះព្រះអង្គ ក៏ទ្រង់ពុទ្ធដំណើរតាមផ្លូវទៅកាន់នគរកុសិ-នារាមួយអន្លើនឹងអានន្ទ លុះព្រះអង្គនឿយព្រះកាយពល ក៏ឈប់អាស្រ័យនៅក្បែរផ្លូវថ្នល់ ហើយទារទឹកឆាន់ អានន្ទក៏ក្រាបបង្គំទូលថាទឹកនោះល្អក់ទៅហើយដោយរទេះ ៥០០ បរកាត់ ថាសូមព្រះអង្គយាងហួសទៅឲ្យដល់ស្ទឹងកកុដ្ឋា ព្រោះទឹកនៅទីនោះថ្លាល្អ ។

លុះព្រះអង្គទ្រង់ប្រើផ្ទួនដល់ ២ ដងទៀត អានន្ទក៏ទៅដងទឹកនោះយកមកថ្វាយ តែគួរជាទីអស្ចារ្យណាស់ វេលានោះទឹកដែលល្អក់នោះត្រឡប់ទៅជាថ្លាល្អវិញ ។

ក្នុងវេលានោះមានអ្នកស្រុកមល្លម្នាក់ឈ្មោះបុក្កុស មានដំណើរពី

កុសិនារា ដោយរទេះ ៥០០ (រទេះទាំងនោះហើយដែលបានធ្វើទឹកឲ្យល្អក់) នាយរទេះនោះក៏ចូលមកចំពោះព្រះភក្ត្រ ហើយសន្ទនាជាមួយព្រះបរមគ្រូ រួចពីនោះបានថ្វាយចីពរមាស ១ ឲ្យទៅព្រះអង្គ ១ ទៀតទៅអានន្ទ ចីពរមាសនោះ វេលាដែលបានយកទៅប៉ះពាល់ដល់ព្រះអង្គក៏បាត់រស្មីអស់ទៅ ឯកាយព្រះអង្គក៏ចេញនូវរស្មីចម្លែកព្រោងព្រាតក្នុងវេលានោះ ភេទនេះមានតែ ២ ដងទេ គឺមុនបានពោធិញ្ញាណម្តងនិងមុនបរិនិព្វាណម្តង ។

លុះពុទ្ធដំណើរទៅដល់ស្ទឹងកកុដ្ឋា ព្រះអង្គក៏ទ្រង់ស្រង់ទឹកស្ទឹងនោះ ហើយទៅអាស្រ័យនៅភូមិ អម្ពវន រួចពីនោះទ្រង់ក៏ឆ្លងកាត់ស្ទឹង ហិរន្យវតី ហើយឈប់នៅប្រែបកុសិនារា ក្នុងព្រៃសាល (រាំង) នៃពួកមល្ល អានន្ទបានរៀបទីផ្ទំថ្វាយព្រះអង្គ នៅកណ្តាលដើមរាំងភ្លោះទាំងគូ ហើយព្រះសម្ពុទ្ធក៏ផ្ទំសន្ធឹងផ្អៀងខាងស្តាំផ្តោះព្រះសិរទៅទិសខាងជើង ។ ពិតមែនជារដូវនោះមិនមែនជារដូវឈើផ្កាតែឯដើមរាំងទាំងនោះក៏ត្រឡប់ទៅជាផ្កាយោនយានធ្លាក់មកលើព្រះបរមគ្រូ លាយឡំទៅដោយផ្កាមន្ទារ ដែលបណ្តាទេវបុត្រ ទេវតា បាចសាចពីលើមក ហើយព្រះអង្គក៏បើកពុទ្ធឧស្ឋចំពោះទៅអានន្ទថា ៖

"ម្នាលអានន្ទ អស់ផ្កាទាំងឡាយធ្លាក់មកពីលើដើមរាំងដែលជាផ្កាខុសរដូវ ឯផ្កាមន្ទារ ដែលជាផ្កាទិព្វ ធ្លាក់មកពីលើមេឃ មួយអន្ទើទឹងម្យ៉ាក្រឹស្នា ហើយឯសូរស័ព្ទតន្ត្រីនិងសូរចម្រៀងក៏ធ្វើឲ្យឮនៅខាងលើដើម្បីជាទីគោរពដល់តថាគត ម្នាលអានន្ទ ដែលជាការពិតនោះមិនមែន

ត្រូវគោរពដល់តថាគតដោយបែបនេះទេ ប៉ុន្តែប្រសិនបើភិក្ខុ ឬ ភិក្ខុនី ឧបាសក ឬ ឧបាសិកាណាមួយ កាន់យកនូវកិច្ចការដ៏ប្រសើរ ឬ នូវកិច្ចការជាបន្ទាប់បន្សំ ប្រព្រឹត្តដោយត្រឹមត្រូវ ធ្វើតាមបញ្ញត្តិ អ្នកនោះឯងហើយ ឈ្មោះហៅថាគោរពតថាគត ដោយសេចក្តីគោរពយ៉ាងខ្ពស់ នេះហើយជាកិច្ចត្រូវសិក្សារៀន ។

ព្រះពុទ្ធអង្គបានសម្តែងតទៅទៀត ជាច្រើនទ្រង់តម្រូវកន្លែងគោរព ៤ កន្លែង ដែលគួរដល់អ្នកប្រតិបត្តិ គឺស្រុកកបិលវត្ថុ ១ ពុទ្ធគយា ១ បេណារេស ១ និង កុសិនាក ១ ។

ម្នាលអានន្ទ កន្លែងដែលត្រូវកុលបុត្រអ្នកជឿសាសនាទីមួយ ៗ ចូលទៅមើលដោយមានចិត្តស្ងួតស្ងប់នោះមាន ៤ គឺ កន្លែងដែលតថាគតប្រសូតិ ១ កន្លែងដែលតថាគតបានសម្រេចពោធិញាណ ១ កន្លែងដែលសម្តែងធម្មចក្រ ១ ហើយនឹងកន្លែងដែលតថាគតរំលត់រំលាងបញ្ចខន្ធជាស្រឡះ១ នោះអស់ទាំងអ្នកបួសទាំងឡាយ និងឧបាសក បុរសនិងស្ត្រី បុគ្គលណាដែលស្លាប់ក្នុងវេលាទៅកាន់កន្លែងនោះ នឹងបានទៅសោយសម្បត្តិសួគ៌ ។

អានន្ទសួរទៅព្រះអង្គទៀតថា " ចុះត្រូវប្រព្រឹត្តដូចម្តេចចំពោះទៅលើស្ត្រី ទ្រង់ត្រាស់ថាកុំឲ្យមើល ចុះបើប្រសិនជាមើល ថាត្រូវកុំឲ្យនិយាយផង ចុះបើប្រសិនជានិយាយជាមួយ ត្រូវមានសេចក្តីប្រយ័ត្នឲ្យមែនទែនកុំធ្វេសឡើយ" ។ អំពីការបូជាសពរបស់ព្រះអង្គនោះ ព្រះអង្គប្រាប់ថា

ត្រូវធ្វើឲ្យដូចសពស្ដេចចក្រពត្រាធិរាជ ប៉ុន្តែថាត្រូវសង្ឃទាំងពួងបណ្ដោយឲ្យឧបាសកធ្វើវិញ ។

ក្នុងវេលានោះអានន្ទកើតទុក្ខជាទម្ងន់ ក៏ចូលទៅក្នុងវិហារហើយតោងខ្លោងទ្វារហើយទួញថា "ខ្លួនអញត្រូវការនឹងរៀនទៀត និងសិក្សាទៀត ឥឡូវនេះ គ្រូអញដែលតែងតែធ្វើឲ្យល្អដល់អញ នឹងបរិនិព្វានទៅ" ព្រះសម្ពុទ្ធមានបន្ទូលសួរទៅភិក្ខុទាំងឡាយថាអានន្ទទៅណា ភិក្ខុទាំងនោះក្រាបទូលថា អានន្ទចូលក្នុងវិហារ ហើយកំពុងតែឈរយំនៅទៀបខ្លោងទ្វារ អ្នកទាំងឡាយចូលទៅហៅអានន្ទមក អានន្ទក៏ចូលមក ព្រះបរមគ្រូបើកព្រះឱស្ឋថា នែអានន្ទចូរឈប់កើតទុក្ខឈប់ថ្ងូរទៅ តថាគតមិនបានប្រាប់អ្នកតាំងពីយូរហើយ ឬ អំពីសេចក្ដីខូចខាត ប្រាសព្រាត់ និងឃ្លាតទៅនៃរបស់អ្វីៗ ដែលយើងគាប់ចិត្ត អានន្ទ របស់អ្វីដែលកើតឡើងដែលមានឡើង ដែលតាក់តែងឡើង ហើយដែលមានធម្មតា ថាត្រូវតែរលាយ ហើយធ្វើដូចម្ដេចនឹងអាចឲ្យផុតពីរលាយទៅបាន របស់យ៉ាងនេះ មិនអាចនឹងប្រាសចាកសេចក្ដីរលាយអន្តរាយទៅបានឡើយ ម្នាលអានន្ទ ដែលអ្នកគោរពតថាគតដោយកាយដោយវាចា និងដោយចិត្ត ដ៏ប្រពៃស្មោះត្រង់នឹងតថាគត នឹងកំណត់ធៀបមិនបានអស់កាលអង្វែងយូរមកហើយខ្លួនអ្នកបានទីដ៏សមគួរហើយ អានន្ទ ចូរខំសង្វាតបន្តិចទៅទៀត អ្នកនឹងបានសម្រេចមិនខាន ។

រួចពីនោះព្រះបរមគ្រូក៏ប្រើអានន្ទឲ្យទៅឲ្យដំណឹងដល់ពួក មល្លនៅកុសិនារា ថាព្រះអង្គនឹងបរិនិព្វានរំលត់ខន្ធនូវយាមក្រោយបំផុតនៃយប់

នោះពួកមល្លក៏រត់មកហើយក្រៀមក្រំពល់គ្នា   អានន្ទក៏ឲ្យចូលទៅដោយពួកៗ ចំពោះព្រះភក្ត្រព្រះអង្គ ។

មានតាបសព្រាហ្មណ៍ម្នាក់នៅកុសិនារា ឈ្មោះសុភទ្រ ដែលនៅមានសង្ស័យមិនទាន់អស់នៅឡើយ មកសូមឲ្យព្រះអង្គពន្យល់ លុះព្រះអង្គសម្តែងតែ ២-៣ ព្រះឱស្ឋទៅក៏អស់សង្ស័យ សុភទ្រក៏ទទួលចូលក្នុងពុទ្ធសាសនា ហើយក៏បានសម្រេចអរហត្តផលក្រោយនោះបន្តិច សុភទ្រនេះហើយដែលជាសាវកជាន់ក្រោយបំផុតរបស់ព្រះអង្គ ដែលគន្ថធរមានទៅ " បច្ឆិមោសក្ខិ សាវកោ " ។

រួចពីនោះព្រះអង្គតាំងឱ្វាទទៀតថា :

" អានន្ទ ប្រហែលជាអ្នកមានគំនិតថាដូច្នេះ ពាក្យគ្រូយើងនោះកន្លងហួសទៅហើយ យើងគ្មានគ្រូទៀតទេ មិនត្រូវគិតដូច្នេះឡើយ ធម៌និងវិន័យដែលតថាគតបានសម្តែងហើយ បានបញ្ញត្តិហើយដល់អ្នកទាំងឡាយ នោះហើយជាគ្រូនៃអ្នកជាក្រោយដែលតថាគតបរិនិព្វានទៅ" ។

មានលក្ខណៈរបៀបពាក្យមួយ សព្វថ្ងៃនេះភិក្ខុទាំងឡាយហៅគ្នាទៅវិញទៅមកដោយផ្តើមពាក្យថាអាវុសោ តាំងពីវេលានេះទៅ ភិក្ខុចាស់វស្សានិយាយនឹងភិក្ខុខ្ចីវស្សាត្រូវហៅចេញឈ្មោះភិក្ខុនោះឬ ឈ្មោះគោត្រកុលភិក្ខុនោះ ឬ ត្រូវហៅថា ភិក្ខុ ឬ ថាអាវុសោ ភិក្ខុខ្ចីវស្សា និយាយទៅនឹងភិក្ខុចាស់វស្សាថា ភន្តេ ឬ អាយុស្មា ។

អានទណ្ឌកម្មមួយ គេនឹងត្រូវទោសព្រហ្មទណ្ឌ មិនឲ្យធ្វើកម្មជាមួយដល់ភិក្ខុឈ្មោះ ឆន្ន ។

ពេលក្រោយបំផុតនេះព្រះអង្គបានបើកឲ្យ សាវ័កណាដែលមានសេចក្ដីសង្ស័យឲ្យទូលសួរព្រះអង្គតែសាវ័កទាំងអស់ស្ងៀម ទើបព្រះអង្គបញ្ចប់សេចក្ដីដោយពាក្យដូច្នេះថា ឥឡូវនេះ ម្នាលភិក្ខុទាំងឡាយអើយ តថាគត ទូន្មានអ្នក របស់ទាំងឡាយដែលកើតឡើងហើយ ត្រូវតែរលាយទៅវិញជាធម្មតា ត្រូវអ្នកទាំងឡាយខំសូត្ររៀនឲ្យមាំមួនដើម្បីជាប្រយោជន៍ដល់ខ្លួន នេះហើយជាពាក្យក្រោយបំផុតរបស់ព្រះពុទ្ធ ចិត្តព្រះអង្គក៏ឡើង ៗ តាមថ្នាក់រូបឈានទាំង ៤ និងតាមអរូបឈានដរាបដល់ផុតវេទនាទឹងសញ្ញា អានន្ទ សួរទៅព្រះអនុរុទ្ធថា ព្រះសម្ពុទ្ធរលត់ហើយឬ? ប៉ុន្តែអនុរុទ្ធ ឆ្លើយតាសមកវិញថាទេនៅឡើយ វេលានោះព្រះអង្គត្រឡប់តាមកន្លែងដែលដរាបដល់ឈានជាបឋមវិញ ហើយក៏ឡើងៗវិញ លុះដល់ចតុត្ថជ្ឈានហើយក៏រលត់ក្រោយនោះបន្តិច ៗ

ព្រះអនុរុទ្ធក៏លួងលោមអស់ភិក្ខុទាំងអស់ដែលកំពុងកើតទុក្ខ ហើយប្រើអានន្ទឲ្យនាំដំណឹងទៅកុសិនារា ក្រោយនោះបន្តិចលេចពួកមល្លមកដល់មួយអន្ទើរដោយភ្លេង គ្រឿងក្រអូបនិងសំពត់ ៗ កំណត់ ៦ ថ្ងៃពួកទាំងនេះគោរពដល់សពព្រះបរមគ្រូដោយចម្រៀង តន្ត្រីនិងរបាំ លុះថ្ងៃទី ៧ ពួកទេវតានិងពួកមល្លនាំគ្នាយកព្រះសព ទៅក្នុងនគរកុសិនារាចូលតាមទ្វារខាងជើង លុះដល់កណ្ដាលក្រុង ហើយចេញតាមទ្វារខាងកើតទើបតម្កល់លើគំនរឧសនៅទីមកុដពន្ធចេតិយ ហើយគេយកភ្លើងទៅឈូលគំនរឧសទាំងនោះទៅ មិនបានឆេះដូចសេចក្ដីប្រាថ្នា អនុរុទ្ធឲ្យដំណឹងទៅថាភ្លើងមិនអាចនឹងឆេះជាមុនដែលមហាកស្សបបានថ្វាយបង្គំ ដល់ព្រះ

បាទព្រះបរមគ្រូឡើយ ។

ឯមហាកស្សបក៏ត្រឡប់ពីបាវាចូលមកកុសិនារាវិញ មួយអន្លើដោយភិក្ខុ ៥០០ អង្គមកតាមផ្លូវបានជួបនឹងអាជីវកម្នាក់កាន់ផ្កាមន្ទារវ ហើយបានឲ្យដំណឹងថា ព្រះបរមគ្រូបរិនិព្វានមួយអាទិត្យទៅហើយ មហាកស្សបក៏ចំស្រូតដំណើរដល់មកនគរកុសិនារា ហើយចូលទៅក្រាបចំពោះព្រះអង្គទើបដើរប្រទក្សិណ ៣ ជុំ ឃើញព្រះបាទទាំងគូលៀនចេញមកហើយក្រាបថ្វាយបង្គំទូលព្រះបាទនោះ រួចពីនោះគំនរឧសក៏ឆេះឯងមួយរំពេចឆេះខ្លួចគ្មានសល់ផេះសល់កំទេចធ្យូងសោះឡើយ ប៉ុន្តែសល់តែធ្អឹងដែលគេយកទៅតម្កល់នៅសាលាប្រជុំនៃពួកមល្លហើយក៏ធ្វើបុណ្យគោរពជាថ្មី ៧ ថ្ងៃទៀត ។

ដំណឹងនៃបរិនិព្វាន ក៏ផ្សាយខ្ចរទៅហើយមានបម្រើពីនគរផ្សេង ៗ មកទារយកចំណែក មានបម្រើពីនគរមគធ ពីពួកលិច្ឆវីនៅវេសាលី ពីពួកសាក្យនៅកបិលវត្ថុ ពីពួកពុលិនៅអល្លកប្ប ពីពួកកោលិយនៅរាមគ្រាម ពីពួកព្រាហ្មណ៍នៅវេដ្ឋទីប ពីពួកមល្លនៅបាវា ។

បុនដំបូង អ្នកនគរកុសិនារាមិនព្រមឲ្យ ប៉ុន្តែព្រាហ្មណ៍ម្នាក់ឈ្មោះទោណប្រកាសឡើងថាជាការមិនគប្បីដែលគោរពដល់ព្រះពុទ្ធហើយមកឈ្លោះដណ្ដើមទូវសារីរិកធាតុដូច្នេះ ព្រាហ្មណ៍នេះខ្លួនបានឲ្យចែកចំណែកជា ៨ ហើយក្នុងចំណែកនីមួយៗត្រូវបញ្ចុះក្នុងស្តូប ១ (ចេតិយ) ព្រមព្រៀងគ្នាជាស្រឡះហើយព្រាហ្មណ៍ក៏ថែចំណែកខ្លួនឯង ហើយចំណែកដែលត្រូវបានខ្លួននោះគឺក្អម (កុម្ភ) ដែលដាក់ព្រះអដ្ឋិធាតុនោះ ... ចែក

ជាស្រេចៈ ទើបមានបម្រើពីពួកមោរិយនៅស្រុកបិប្ផលីវនមកដល់ទៀត គេក៏បានឲ្យធ្យូងទៅ ( អង្គារ ) ។

មានចេតិយ ១០ ដែលបានសាងក្នុងជាន់នោះគឺសារីស្តូប ៨ នៅក្នុងក្រុងរាជគ្រឹះ, វៃសាលី, កបិលវស្តុ, អល្លកប្ប, រាមគ្រាម, វេដ្ឋទីប, បាវា, កុសិនារា ។

អង្គារ ស្តូប ១ នៅស្រុក បិប្ផលីវន

កុម្ភៈ ស្តូប ១ នៅកន្លែងមិនបានប្រាកដក្នុងគម្ពីរ ។

ចំនួនប្រហែល ៤៥០ ឆ្នាំ តពីនោះមក ព្រះបាទអសោកនៃនគរមគធ បានប្រមូលសារីរិកធាតុពីស្តូបដើមទាំងអស់មកដាក់ក្នុងស្តូបទាំង ៨៤.០០០ (១) ដែលទ្រង់សាងថ្មីដោយព្រះរាជទ្រព្យព្រះអង្គឯង ប្រហែលជាស្តូបដែលស្តេចនេះសាងហើយ ដែលគេបានរកឃើញមួយកាលពីឆ្នាំ ១៨៩៨ នៅជិតស្រុកបិប្រាហ៍ នៅចុងព្រំឦសាននៃតំបន់បស្តិ ចម្ងាយប្រហែល ១ គីឡូម៉ែត្រខាងអាយព្រំដែននេប៉ាល ក្នុងស្តូបនោះមានកោដ្ឋ ១ គឺធ្វើពីថ្មសិលាមានធ្មឹងតូចៗ ខ្លះនៅខាងក្នុង ហើយមានចារឹកជាអក្សរព្រះបាទអសោក ដាក់សេចក្តីបញ្ជាក់ថាជាព្រះអដ្ឋិព្រះពុទ្ធ (២) ។

---

១- លេខសម្រាប់ធម្មក្ខន្ធ ដើម្បីកំណត់ឲ្យឃើញចំនួនច្រើន ។

២- សេចក្តីក្នុងចារឹកនោះថា: សុកិតិភតិនំ សបុតទលន ឥយំ សលិលនិធនេ ពុទ្ធស ភគវតេ សកិយនំ សេចក្តីថា កន្លែងបញ្ចុះ ព្រះសារីរិកធាតុ ព្រះសាក្យមុនីនេះ ជាការទ្រទ្រង់ សាសនានៃពួកបងប្អូន សុកិតិ ព្រមទាំងជាមួយនឹងបងប្អូនស្រី មួយអន្លើដោយបុត្រ និង ភរិយា (សេចក្តីប្រែ អ.បាថ៌) សេចក្តីអធិប្បាយ ជ្រូស ឆ្នាំ ១៨៩៨ ទំព័រ ៥៧៣ បាថ៌ ក្នុង សៀវភៅ ព្រោយពីឆ្នាំ ១៨៩៨ ទំព័រ ១៤៦ និង ២៣១ យោបល់ក្នុងការស្វែងរកអ្នកប្រាជ្ញ ពី វែនរុប ១៩០៦ ហ្វ្លេអេត ក្នុងសៀវភៅ ជ្រូស ឆ្នាំ ១៩០៥ ទំព័រ ៦៨០

# សកវាជ

តាមពួកសិង្ហលេ (លង្កា) ថាព្រះអង្គបរិនិព្វានទៅឆ្នាំ ៥៤៤ មុនហេរិហ្សយគ្រិស្ត តាមពួកចិន និងជប៉ុន ថាពីឆ្នាំ ៩៤៩ មុនហេរិហ្សយគ្រិស្ត ឆ្នាំខាងក្រោយនេះ ឃើញថាយហួសពេក ឯឆ្នាំខាងដើមដែលប្រហែលជាមិនទាន់ចាប់ប្រើមុន ១១ សែក គឺឆ្នាំ ១១០០ នោះ ក៏ឃើញនៅលើសប្រហែល ៦០ ឆ្នាំដែរ ដើម្បីនឹងបានជាការពិតប្រាកដនោះ គេលែតាមបែបដូចមានខាងក្រោយ អសោកក្នុងប្រកាសទី ១៣ នោះ ឃើញមានឈ្មោះស្ដេចក្រិកក្នុងជាន់នោះ ៥ នាក់ ហើយសកវាជដែលគេដឹងនោះនៅក្នុងឆ្នាំ ២៥០ មុនហេរិហ្សយគ្រិស្ត ប្រកាសនេះ បានតែងនៅឆ្នាំទី ១៤ ក្រោយដែលអភិសេកព្រះអង្គឡើងគ្រងរាជសម្បត្តិ ឯអភិសេកនោះ នៅក្នុងឆ្នាំ ២៦២ ហើយបរិនិព្វានមុនរាជាភិសេកនេះចំនួន ២១៨ ឆ្នាំ គឺក្នុងឆ្នាំ ៤៨០ មុនហេរិហ្សយគ្រិស្ត ឯដែលនឹងគិតអំពីពុទ្ធកាលនោះត្រូវរៀបដូច្នេះ ៖

| | | |
|---|---|---|
| ប្រសូតក្នុងឆ្នាំ . . | ៥៦០ | មុនគ្រិស្តសករាជ |
| ចេញទ្រង់ផ្នួស. . . | ៥៣១ | . . . . . |
| សម្រេចពោធិញាណ . . | ៥២៥ | . . . . . |
| បរិនិព្វាន . . . . | ៤៨០ | . . . . . |

# បរិច្ឆេទទី ៣

## ភាគទី ១

## អំពីបឋមសង្គីតិ និង ទុតិយសង្គីតិ (១)

### ភាគទី ១ អំពីបឋមសង្គីតិ គឺសង្គាយនាជាដំបូង ។

នៅវេលាដែលព្រះសម្មាសម្ពុទ្ធទ្រង់បរិនិព្វាន នោះព្រះមហាកស្សប កំពុងតែនិមន្ត តាមផ្លូវពីបាវា ទៅកុសិនារា លុះបានជួបនឹងអាជីវកម្នាក់ នៅកណ្ដាលផ្លូវ មហាកស្សបក៏បានដំណឹងថាព្រះបរមគ្រូបរិនិព្វាន ៧ ថ្ងៃកន្លងទៅហើយ លុះឮច្បាស់ដំណឹងនេះវេលាណា ភិក្ខុសង្ឃបំពួកខ្លះ ក៏កើតសេចក្ដីខ្សឹកខ្សួលអាឡោះអាល័យដល់ព្រះបរមគ្រូពន់ប្រមាណ ឯភិក្ខុបំពួកខ្លះដែលបានសម្រេចមគ្គផលហើយ គ្រាន់តែមានធម្មសង្វេគស្ងួតស្ងប់ ដោយគិតឃើញដោយសេចក្ដីមិនទៀង (អនិច្ចំ) ក្នុងវេលានោះ មានភិក្ខុចាស់ម្នាក់ឈ្មោះសុភទ្រ ដែលជាអ្នកប្រទូស្តដល់ព្រះបរមគ្រូ ហើយធ្វើឲ្យឃើញសេចក្ដីត្រេកអរដោយពោលថា “នែអ្នកទាំងអស់គ្នា ចូរឈប់កើតទុក្ខទៅ កុំខ្សឹកខ្សួលកុំត្អូញត្អែរឡើយ យើងទាំងអស់គ្នារួចពីកណ្ដាប់ដៃនៃមហាសមណ ដែលជាអ្នកតែងបញ្ញត្តិដូចនេះ ដូចនោះដល់យើងថា ធ្វើយ៉ាងនេះគួរ ធ្វើយ៉ាងនោះមិនគួរ ឥឡូវនេះ យើងចង់ធ្វើអ្វីក៏បាន យើង

---

១- គោលដើម ចុល្លវគ្គ, ភាគទី ១១-១២ ក្នុងវិន័យបិដក, អ្នកតែងឈ្មោះ អុលដិនបែរ វ៉ុល ២ ទំព័រ ២៨៤; សមន្តបាសាទិកា, វ៉ុល ១ ទំព័រ ២៨៣ សុមង្គលវិលាសិនី, វ៉ុល ១ ទំព័រ ២; ទីបវំស, ភាគទី ៤-៥; មហាវំស, ភាគទី ៣-៤ ។

មិនចង់ធ្វើក្ដីកុំធ្វើទៅ" ព្រះមហាកស្សប នៅវេលាដែលបានជ្រាបនូវគ្រោះការ គឺសេចក្ដីបម្រួងបម្រះនេះ ហើយក៏យល់ថារឿងនេះ អាចនឹងនាំចំបែកសាសនាថ្មីបានមិនខាន ក៏ពិចារណាថា កិច្ចយ៉ាងសំខាន់ដែលនឹងរម្ងាប់នូវសេចក្ដីបម្រួងបម្រះនេះ គឺត្រូវតែប្រមូលប្រជុំនូវពុទ្ធវចនៈជាភាសិតនៃព្រះបរមគ្រូ ឱ្យមានជារបៀបរៀបរយឡើងទើបគួរ ។

លុះដល់រំលាយព្រះបរមសពជាស្រេចវេលាណាហើយ មហាកស្សបក៏ប្រាប់ទៅដល់សង្ឃភាគច្រើនថា គួរនឹងប្រជុំភិក្ខុសង្ឃទាំងអស់ ដើម្បីផ្ទៀងផ្ទាត់ធម៌និងវិន័យឱ្យត្រូវគ្នាជាបែបមួយ ហើយសូត្រធម៌វិន័យនោះឱ្យត្រឹមត្រូវព្រមគ្នា ព្រោះក្នុងវេលានោះ មិនទាន់មានកត់ត្រាពុទ្ធវចនៈនោះ ក្នុងស្លឹករឹតនៅឡើយ គឺថាធម្មវិន័យនឹងមានប្រាកដគង់នោះ ក៏ព្រោះតែអាស្រ័យនូវស្មារតី ខាំដួនប៉ុណ្ណោះ ។

លុះជំនុំសង្ឃយល់ព្រមមូលមាត់គ្នាហើយ ព្រះកស្សបត្ថេរក៏រើសយកព្រះអរហន្តចំនួន ៤៩៩ អង្គ ដើម្បីតាំងប្រជុំនោះ ហើយកបបញ្ញាលព្រះមហាអានន្ទ ១ ផង ។ ឯព្រះមហាអានន្ទដែលតាមដោយពិតនោះ មិនទាន់បានអរហត្តផលនៅឡើយទេ ក្នុងវេលានោះតែព្រោះមិនដែលឃ្លាតឆ្ងាយពីព្រះសម្មាសម្ពុទ្ធសោះឡើយ ក៏អាចនឹងនាំនូវធម៌កាន់ជាប្រាកដផ្ទាល់ពីពុទ្ធឱស្ឋ ជាងសាវ័កទាំងពួក ។

រួចពីនោះមកក៏ជំនុំគ្រប់ចំព្រះថេរទាំង ៥០០ អង្គនេះ នឹងត្រូវការប្រជុំគ្នាឯក្រុងរាជគ្រឹះក្នុងវេលាវស្សា ហើយត្រូវហាមប្រាមមិនឱ្យភិក្ខុឯទៀត

ចូលទៅនៅក្នុងទីនោះឡើយ ។

លុះដល់រដូវកំណត់ទុកហើយ ព្រះថេរទាំងឡាយក៏ទៅប្រជុំនៅក្រុងរាជគ្រិស្ត ក៏ក្នុងយប់មុនវេលាដែលបើកឱកាសប្រជុំនោះ ព្រះមហាអានន្ទក្រោកពីដំណេក ហើយអង្គុយចម្រើននូវកម្មដ្ឋាន លុះព្រឹកឡើងព្រះអានន្ទ ក៏ប្រាសខ្លួនសឹងទៅលើមញ្ចាសន គឺគ្រែសម្រាប់សិង នៅវេលាដែលព្រះសិរប៉ះពាល់ដល់ខ្នើយហើយ ជើងក៏ផុតចាកពីដី អានន្ទក៏បានអរហត្តផលនៅក្នុងវេលានោះ ។

ឯទីប្រជុំនោះគេបានតាំងនៅលើភ្នំវេភារ ( ផ្ន.វេភារ ) (១) ក្នុងមណ្ឌលមួយ ដែលព្រះបាទអជាតសត្រូវបានសាងនៅមាត់ទ្វារគុហាសត្តបណ្ណិ រួចហើយព្រះមហាកស្សបបានចោទសួរទៅព្រះឧបាលិ និងព្រះអានន្ទ ក៏ព្រះឧបាលិវិសជ្ជនាព្រះវិន័យ អានន្ទវិសជ្ជនាព្រះធម៌ លុះដល់វេលាដែលចប់សេចក្តីចោទឆ្លើយនោះបានសូត្រប្រជុំគ្នា តាមបែបដែលបានវិនិច្ឆ័យសម្រេចឲ្យប្រតិបត្តិតាមតទៅ ឯច្បាប់គឺវិន័យនោះបានបញ្ចូលទៅក្នុងវិន័យបិដក ឯធម៌នោះបានបញ្ចូលទៅក្នុងនិកាយទាំង ៤ គឺសុត្តន្តបិដក ឯចំណែកខាងអភិធម្មនោះមិនឃើញមានសម្តែងក្នុងគម្ពីរទាំងឡាយដែលចាស់ជាងគេនោះទេ ក្នុងគម្ពីរសមន្តបាសាទិកាទៀត ក៏មិនឃើញមានសម្តែងដែរ ប៉ុន្តែមកឃើញមានក្នុង សុមង្គលវិលាសិនីថា ឯអ្នកដែលសម្តែងព្រះអភិធម្មនោះ គឺព្រះកស្សបនោះឯង ។

---

១- វៃហារ (ខេហាវត្ថុ) ។

គពីសេចក្តីគត់ហេតុនៃសង្គាយនានោះ គម្ពីរចុល្លវគ្គ សម្តែងអំពីហេតុ ៤ យ៉ាងដែលជាបន្ទាប់មកទៀតគឺ :

ក- អំពីសិក្ខាបទតូច ៗ បន្ទាប់បន្សំ

ខ- សេចក្តីពិរុទ្ធលើអានន្ទ

គ- វិវាទាធិករណ៍ នៃភិក្ខុឈ្មោះបុរាណ

ឃ- ព្រហ្មទណ្ឌនៃឆន្ន

## អំពីសិក្ខាបទតូច ៗ បន្ទាប់បន្សំ

ព្រះអានន្ទប្រាប់ថា មុនព្រះបរមសាស្តា [illegible] ចូលបរិនិព្វាន នោះព្រះបរមគ្រូបានអនុញ្ញាតដល់សង្ឃឲ្យលប់លើកចោលសិក្ខាបទតូច ៗ បន្ទាប់បន្សំចេញខ្លះបាន ( ខុទ្ទកានុខុទ្ទកានិ សិក្ខាបទានិ ) ដោយសេចក្តីតម្រូវពីព្រះកស្សប និងដំនុំសង្ឃព្រមគ្នាសម្រេចសេចក្តីថា មិនត្រូវលើកតាមសេចក្តីអនុញ្ញាតនោះឡើយ ។

## អំពីសេចក្តីពិរុទ្ធលើអានន្ទ

សេចក្តីចោទ តាំង ៥ ខ ដែលក្រុមការកសង្ឃចោទលើអានន្ទតម្រូវឲ្យខមាទោស ក្នុងវេលាក្រោយដែលធ្វើយជោះសារួចហើយ ។

សេចក្តីចោទទី ១ អំពី អានន្ទ មិនបានទូលសួរដល់ព្រះបរមគ្រូអំពីសិក្ខាបទតូចៗ ណាខ្លះ? អានន្ទឆ្លើយថា គឺដោយមិនបានគិតទូលសួរព្រះសាស្តាទារ ។

សេចក្តីទោសទី ២ អំពី អានន្ទ បានយកសំពត់វស្សិក (វស្សិកសាដិកា) របស់ព្រះសាស្តាចារ្យ ទៅឈ្លីដោយជើង នៅវេលាដែលដេរប្តះហើយ ព្រះអានន្ទឆ្លើយថា មិនបានធ្វើដោយសេចក្តីប្រមាទមើលងាយឡើយ ។

សេចក្តីទោសទី ៣ អំពី អានន្ទ បានអនុញ្ញាតឲ្យស្រីទាំងឡាយចូលគោរពព្រះសពព្រះបរមគ្រូជាមុន ហើយជាទីធ្វើឲ្យជាប់ជាមសៅហ្មងសពព្រះអង្គដោយទឹកភ្នែក ព្រះអានន្ទឆ្លើយថា ដើម្បីកុំឲ្យស្រី ៗ ទាំងឡាយនោះ នៅ ៗ ទីនោះ ហួសពេលដែលបានអនុញ្ញាតទុកហើយ ។

សេចក្តីទោសទី ៤ អំពីព្រះជិនមារបានឲ្យន័យបំភ្លឺដល់អានន្ទ ហើយអានន្ទមិនបានអារាធនាព្រះអង្គឲ្យគង់ព្រះជន្មនៅដរាបដល់គ្រប់១កប្ប, ឆ្លើយថា ព្រោះវេលានោះយោបល់ អានន្ទ លុះក្នុងកណ្តាប់ដៃមារ ។

សេចក្តីទោសទី ៥ អំពី អានន្ទ យកចិត្តទុកដាក់ទាំងអស់ពីចិត្ត ដើម្បីឲ្យស្រី ចូលបួសក្នុងពុទ្ធសាសនា ឆ្លើយថា ដោយការសង្គ្រោះដល់មហាប្រជាបតីជាព្រះមាតុច្ឆា ហើយជាមេដោះបំបៅព្រះបរមសាស្តាចារ្យផង ។

## អំពីវិវាទាធិករណ៍របស់ភិក្ខុឈ្មោះបុរាណ

លុះសង្គាយនាស្រេចហើយ ៗ ភិក្ខុសង្ឃទាំងឡាយ ក៏អាស្រ័យនៅវេណុវ័ន ស្រាប់តែបុរាណនឹងភិក្ខុ ៥០០ មកដល់ពី “ ភ្នំខាងត្បូង ” គេបានឲ្យដំណឹង អំពីការសង្គាយនាដែលបានធ្វើហើយតម្រូវឲ្យកាន់យកនូវធម៌វិន័យ ដែលបានវិនិច្ឆ័យរួចហើយនោះ ឲ្យប្រតិបត្តិតាម ប៉ុន្តែបុរាណឆ្លើយតបទៅវិញថា ពីរោះពិតណាស់ហើយដែលព្រះថេរសម្តែងនូវធម៌

វិន័យប្រាប់នោះ  តែធម៌ឯណាវិន័យឯណាដែលខ្ញុំបានឮពីពុទ្ធនុស្សបាន ទទួលពីពុទ្ធនុស្ស ខ្ញុំនឹងប្រតិបត្តិតាមធម៌និងវិន័យនោះ ។

## អំពីព្រហ្មទណ្ឌនៃឆន្ន

ព្រះអានន្ទប្រាប់ថា  មុនដែលព្រះសាស្ដាបរិនិព្វាននោះ  ព្រះអង្គ បានអនុញ្ញាតឲ្យសង្ឃសម្រេចទណ្ឌកម្ម គឺថាត្រូវហាមមិនឲ្យភិក្ខុឈ្មោះឆន្ន ចូលធ្វើឧបោសថកម្ម  ជាមួយនឹងសង្ឃទាំងពួង អានន្ទ ក៏បានទទួលកិច្ច និងសម្រេចនូវទោសនោះ អានន្ទមួយអន្លើនឹងភិក្ខុទាំង ៥០០ អង្គ យាត្រា ទៅកាន់ឃោសិតារាម ប្របក្រុងកោសម្ពី ជាទីនៅនៃឆន្ន ហើយក៏តម្រូវ នូវទោសនោះ ឆន្នក៏មានវិប្បដិសារីកើតឡើងហើយទទួលទោសនោះ លុះ ក្រោយនោះបន្តិចមក ក៏បានសម្រេចអរហត្តផល ដោយអំណាចអរហត្ត ផលនេះ ទោសដែលសង្ឃហាមមិនឲ្យចូលធ្វើឧបោសថកម្មជាមួយនឹងគេ ក៏រលាយទៅឯង ។

## ភាគទី ២ អំពីទុតិយសង្គីតិ គឺសង្គាយនាជាគម្រប់ ២ ។

តាមទម្លាប់ដែលធ្លាប់ជឿមក ថាទុតិយសង្គាយនានោះ ដែលព្រះ អរហន្តទាំងឡាយលោកធ្វើនៅក្នុងក្រុងវេសាលី  កំណត់ ១០០ ឆ្នាំ ក្រោយពីព្រះពុទ្ធបរិនិព្វាន (ឆ្នាំ ៣៨០ មុនហ៊ិហ្យុយគ្រិស្ត) ក្នុងរាជស្ដេច កាលាសោក  ព្រះចៅក្រុងមគធ សង្គាយនានេះ លោកធ្វើដើម្បីបំបាត់ នូវហេតុទាំង ១០ យ៉ាង (ទសវត្ថុ) (បា.ទសវត្ថូនិ)  របស់ពួកបួស នៅក្នុងក្រុងវេសាលី  ដែលហៅថាពួក (វជ្ជីបុត្រក, បា.វជ្ជីបុត្តក) ដែល

ប្រាថ្នាទ្រង់បន្ធូរបន្ថយនូវសិក្ខាបទតូចៗ ខ្លះ តាមគម្ពីរចុល្លវគ្គថា ហេតុទាំង ១០ នោះ ដូចមានខាងក្រោយគឺ ៖

១- កប្បតិសិង្គិលោណកប្បោ អនុញ្ញាតដល់កិច្ចនៃអំបិល ក្នុងខ្នាក់ស្នែង គឺថាទុកអំបិលបម្រុង ដើម្បីលាយដោយអាហារបិណ្ឌបាតក៏បាន ។

២- កប្បតិទ្វង្គុលកប្បោ អនុញ្ញាតឲ្យបរិភោគនូវអាហារបាន ក្នុងវេលាថ្ងៃជ្រេពីត្រង់ ដែលមានស្រមោលចោលទៅមិនទាន់ហួសពី ២ ធ្នាប់ ។

៣. កប្បតិគាមន្តរកប្បោ អនុញ្ញាតដល់កិច្ចនៃភូមិមួយទៀត គឺថាទ្រង់បរិភោគនូវអាហារមួយលើកទៀតបាន ទៅក្នុងវេលាដែលដើរដល់ភូមិ ១ ថ្មីទៀត ។

៤- កប្បតិអាវាសកប្បោ អនុញ្ញាតដល់កិច្ចនៃលំនៅទាំងពួង គឺថាអនុញ្ញាតឲ្យភិក្ខុដែលនៅកន្លែងច្រើនក្នុងអាវាស ១ ក្នុងសីមាជាមួយគ្នា ឲ្យធ្វើឧបោសថកម្មបែកពីគ្នាបាន ។

៥- កប្បតិអនុមតិកប្បោ អនុញ្ញាតដល់កិច្ចនៃកិរិយាស្ម័គ្រចិត្ត គឺថាទ្រង់អនុញ្ញាតដល់សង្ឃដែលបែបគ្នាហើយ ឲ្យធ្វើឧបោសថកម្មបាន តែត្រូវប្រកាសដល់ភិក្ខុសង្ឃទាំងឡាយ ។

៦- កប្បតិអាចិណ្ណកប្បោ អនុញ្ញាតដល់កិច្ចដែល (ឧបជ្ឈាយ៍) ធ្វើយ៉ាងណាត្រូវឲ្យសទ្ធិវិហារិក ធ្វើបានយ៉ាងនោះ ។

៧- កប្បតិអមថិតកប្បា អនុញ្ញាតដល់កិច្ចនៃទឹកដោះគោមិនទាន់វិក គឺថាក្រោយថ្ងៃត្រង់និងផឹកទឹកដោះគោដែលទៅជាកណ្ដាល គឺមិនមែនទឹកដោះគោស្រស់មិនមែនទឹកដោះគោជូរបាន ។

៨- កប្បតិជលោគិបាតុំ អនុញ្ញាតឲ្យផឹកទឹកត្នោតមិនទាន់ឡើងពពុះ (១) ។

៩- កប្បតិអទសកំនិសីទនំ អនុញ្ញាតដល់កម្រាលមិនមានជាយ គឺថាកម្រាលនោះត្រូវធ្វើឲ្យធំហួសទំហំដែលសម្រេចទុកបាន ហើយមិនត្រូវឲ្យមានជាយឡើយ ។

១០. កប្បតិជាតរូបរជតំ អនុញ្ញាតឲ្យទទួលមាសនិងប្រាក់បាន ។

ក្នុងសម័យមួយនោះ មានព្រះថេរ១អង្គនាមថា យស (សំ.យសស) ជាកូនកាកណ្ឌក មានដំណើរទៅស្រុកវជ្ជិ លុះដល់ក្រុងវេសាលី ក៏ឈប់អាស្រ័យនៅមហាវ័ន ក្នុងកូដាគារសាលា លុះថ្ងៃឧបោសថ ភិក្ខុទាំងឡាយដែលនៅ ៗ ទីនោះយកផ្ដិលស្ពាន់ ១ ដាក់ទឹកពេញទៅដាក់កណ្ដាលជំនុំពួកបរិស័ទ ហើយប្រកាសដល់បណ្ដា ឧបាសក ឧបា-សិកា ឲ្យយកមាសនិងប្រាក់ទៅបង់ក្នុងផ្ដិលនោះ ឯព្រះថេរឈ្មោះយស លោកបានហាមប្រាមមិនឲ្យធ្វើដូច្នោះឡើយ ថាអ្នកបួសមិនត្រូវទទួលមាស និងប្រាក់ទេ តែឧបាសក ឧបាសិកា ទាំងឡាយគេមិនព្រមឈប់

---

១- គឺសេចក្ដីស្រាយក្នុងគម្ពីរចុល្លវគ្គ ប៉ុន្តែ ស.ឡេវី ដែលជាអ្នករុករកក្នុងស្រុកទីបេ ស្រាយថាទឹកស្រាបែបដែលប្លែកបែបសត្វល្អឹង (ជលោក) ជាភាសាមួយដែលមានមុនព្រះពុទ្ធសាសនា ។

បង់មាសប្រាក់ក្នុងថ្លុលនោះសោះ លុះវេលាល្ងាចភិក្ខុទាំងអស់ក៏បែងចែក
គ្នាជាចំណែកៗ ហើយឲ្យ ១ ចំណែកមកយស តែយសមិនព្រមទទួល
យក ហេតុនោះភិក្ខុទាំងអស់ក៏តម្រូវនូវកិច្ចលន់តួទោស គឺកិច្ចដែលបង្គំ
ឲ្យភិក្ខុនីមួយៗ ទៅសូមទោសដល់ ឧបាសក ឧបាសិកា ទាំងឡាយ
ដែលខ្លួនបានធ្វើឲ្យចលាចល ឯព្រះយសដែលទឹងទៅនោះ ដោយមាន
ភិក្ខុ ១ អង្គទៅជាមួយផង ក៏និមន្តទៅកាន់ក្រុងវេសាលី ហើយមិនបាន
លន់តួទោសថាខ្លួនបានប្រព្រឹត្តខុសដូចនោះ ត្រឡប់ទៅជាត្នុះតិះដៀល
ដល់ភិក្ខុទាំងឡាយនោះវិញ ប្រាប់ ឧបាសក ឧបាសិកា លុះដល់ឧបាសក
ទាំងនោះស្គាល់ថាជាពុទ្ធសាវ័ក ១ នៅក្រុងវេសាលី ឯភិក្ខុឯទៀតបញ្ជប់
ទុកដម្រះ ហើយព្រះយសហោះឡើងទៅលើអាកាស ទៅចុះឯនគរ
កោសម្ពី រួចពីនេះមកបានចាត់បម្រើជាច្រើនឲ្យទៅខាងព្រះសង្ឃទៅឯ
លិច (បាដេយ្យក) ព្រះសង្ឃនៅអវន្តិ និងព្រះសង្ឃនៅខាងត្បូង (អវន្តិ-
ទក្ខិណាបថក) ដើម្បីឲ្យនិមន្តទៅប្រជុំស្តាប់សេចក្តីអធិប្បាយ ដែលនឹង
ចាប់ផ្តើមនៅលើភ្នំអហោគង្គនៅក្រោមព្រះថេរ សម្ភូតសាណវាសី (សំ.
សាណវាស) ដែលព្រះយសបាននិយាយនឹងព្រះថេរនេះ ឲ្យជួយឧបត្ថម្ភ
ឯអាស្រមនេះប្រហែលជានៅក្នុងដែនមថុរ ។

ភិក្ខុសង្ឃទាំងឡាយក៏និមន្តទៅប្រជុំឯលើភ្នំ អហោគង្គបានចំនួន
១៤៨ អង្គ គឺ ៦០ ពីទិសខាងលិច ៨៨ ពីស្រុកអវន្តិ និងពីខាងត្បូង
ហើយភិក្ខុទាំងឡាយនោះ មានប្រាថ្នាចង់ឲ្យបានព្រះរេវតជាអ្នកប្រាជ្ញ

ដែលគង់នៅឯសោរេយ្យនគរចូលសមាគមផង ហេតុនោះក៏បបួលគ្នាទៅ ឯព្រះរេវត ដើម្បីពិគ្រោះគ្នា ប៉ុន្តែព្រះរេវតជាអ្នកមិនសូវរវល់នឹងការ វិវាទពីធម៌នោះឡើយ ក៏ចេះតែនិមន្តទៅ ៗ ពីសោរេយ្យទៅសង្កស្ស ទៅកណ្ណកុជ្ជ ទៅឧទុម្ពរ ទៅអគ្គលបុរ ទៅសាហជាតិ នៅកន្លែងក្រោយ នេះហើយដែលភិក្ខុទាំងឡាយខំសង្វាតទៅតាមបានជួបនឹងព្រះរេវត វេលា នោះព្រះយស តាំងកាយឈ្មោះភិក្ខុទាំងអស់ ពិតទៅព្រះរេវត អំពីសេចក្តី ទោសទាំង ១០ នោះហើយ ក៏បានសេចក្តីរីករាយដោយព្រះរេវតស្រុះ ស្រួលទទួលព្រមនឹងរម្ងាប់នូវហេតុទាំងនេះ ។

ឯពួកវជ្ជីភិក្ខុទាំងឡាយ ក៏គិតថា នឹងសូមឲ្យព្រះរេវតជួយឧបត្ថម្ភ ក្នុងការនេះដែរ ហើយយករង្វាន់ទៅប្រគេនដល់ព្រះរេវត តែព្រះរេវត មិនព្រមទទួលយកនូវសំណូកទាំងនោះ ក្នុងវេលានោះភិក្ខុទាំងនោះ ក៏ បានឧត្តរភិក្ខុជួយទៀត ប៉ុន្តែឧត្តរនេះ នៅវេលាដែលចូលទៅនិយាយ ក៏ល្បួងនឹងមើលព្រះរេវត ព្រះរេវតក៏ត្មះតិះដៀលក្នុងវេលានោះ ។

ព្រះរេវតបានបបួលឲ្យតាំងប្រជុំសន្និបាតនៅក្នុងនគរវៃសាលី កន្លែង នោះដែលព្រះសព្វកាមីថេរ (សំ.សវិកាម) ដ៏មានអាយុជ្រុលទៅមុខណាស់ ហើយគង់នៅទីនោះ ព្រះសព្វកាមីនេះ ព្រះជន្មបាន ១២០ ឆ្នាំ ហើយ ជាសិស្សនៃអានន្ទផង ព្រះរេវតក៏ចូលទៅសំណាក់នៅក្នុងវិហារ ព្រះ សព្វកាមីថេរ ហើយមិនបាច់នឹងពន្យល់ច្រើន ដល់ព្រះថេរនេះផង ។

ក្រុមមហាសន្និបាត បានជួបជុំនៅកូដាគារសាលា នាទីមហាវនវិហារ

ហើយ សេចក្តីពិគ្រោះក៏បណ្តាលឡើងជាហេតុឲ្យភាក់ទាមមិនឲ្យព្រម
ព្រៀងគ្នាបានដើម្បីជៀសឲ្យផុតពីសេចក្តីនេះ ព្រះរេវតក៏តម្រូវថា សេចក្តី
ជំនុំនោះត្រូវឲ្យតាំងការកសង្ឃ ១ ក្រុម ដែលមានប្រជុំចំនួន ៨ រូប គឺ
៤ រូបពីទិសខាងកើត ៤ រូបពីទិសខាងលិច បានរើសយកជាតំណាង
សង្ឃពីទិសខាងកើត គឺសព្វកាមី ១, សាឡ្ហ ១, ខុជ្ជសោភិត ១ និង
វាសភគាមិក ១ ហើយជាតំណាងសង្ឃខាងលិច គឺ រេវត ១, សម្ភូត ១,
យស ១ និង សុមន ១ ការកសង្ឃជំនុំតាំងប្រជុំនៅក្នុងវាលុការាមវិហារ
ព្រះរេវតតាំងជាចោទសួរព្រះសព្វកាមី អំពីសេចក្តីហោទន៍ទាំង ១០ ប្រការ
ហើយព្រះសព្វកាមី ក៏ប្រាប់នូវសេចក្តីនោះ ជាដំបូងនៅកណ្តាលជំនុំ
សង្ឃទាំង ៨ រូប រួចពីនោះ ក៏ប្រាប់នូវកណ្តាលមហាសន្និបាតនៃភិក្ខុ
ចំនួន ៧០០ អង្គទៀត ។

គម្ពីរចុល្លវគ្គ មិនឃើញមានសម្តែងបទអ្វីក្រៅអំពីហេតុទាំង ១០ យ៉ាង
នេះឡើយ ព្រះអដ្ឋកថាចារ្យដែលបានតែងគម្ពីរសមន្តបាសាទិកានៅវេលា
ក្រោយ ដែលបានតែងគម្ពីរចុល្លវគ្គ ហើយបានបន្ថែមថា វេលាដែល
ប្រាប់នូវសេចក្តីបំភ្លើសនោះជាស្រេចហើយ ព្រះថេរទាំងឡាយ ក៏បាន
សូត្រគម្រឹមផ្ទៀងផ្ទាត់ធម៌និងវិន័យ ដែលជាពុទ្ធវចនៈដូចកាលសង្គាយនា
លើកទី ១ ដែរ តាមគម្ពីរមហាវង្សមានសម្តែងថា វេលាក្រោយនោះ
បានប្រជុំក្រុមជំនុំសង្ឃម្តងទៀត (ធម្មសង្គហ) ដើម្បីបញ្ជាក់នូវសេចក្តីពិត
ឲ្យតាំងនៅជាអចិន្ត្រៃយ ក្រុមជំនុំនោះ មានចំនួនព្រះថេរដែលមានប្រាជ្ញា

ទៀតចាស់ ៧០០ អង្គ ដែលព្រះរេវត បានរើសយកក្នុងបណ្តាចំនួន ១.២០០.០០០ អង្គ ហើយគាំទនៅកំណត់ ៨ ខែ ក្នុងវាលុការាម ។

ឯចំណែកពួកវជ្ជិបុត្រក៏តាំងលើកសង្គាយនាដែរ ហើយដោយមានមនុស្សច្រើន ក៏ឲ្យឈ្មោះហៅថា "សង្គាយនាធំ" (មហាសំគីតិ) នេះហើយជាដើមកំណើតទី ១ គឺមហាសំគីតិក ឬ មហាសំឃិក ដែលចាស់ខុសគ្នា អំពីពួកចាស់ គឺស្ថវិរ (បា.ថេរ) ។

ឯបណ្តាពួកសំឃិក ក៏បែកចេញជាច្រើនពួកទៅទៀត ហើយពួកដែលស្គាល់ច្បាស់ជាងគេនោះ គឺពួកលោកោត្តរវាទិន គេបានរក្សាទុកគម្ពីរពួកលោកោត្តរវាទិន គឺមហាវស្តុ ហើយគេមានតាំងសេចក្តីប្រែជាភាសាចិន ជាវិន័យពួកនេះផង ។

ឯចំណែកពួកស្ថវិរ ក៏បែកចេញដំបូងជា ២ ពួក ៖

១- គឺពួកវជ្ជិបុត្រក ដែលជាដើមឫសនៃពួកសម្មិតីយ ។

២- គឺពួកមហីសាសក ដែលបែកចេញទៅជាពួក សព្វាស្តិវាទិន និងពួកធម្មគុប្ត ។

ឯពួកសព្វាស្តិវាទិន តាំងបង្កើតឡើង នៅវេលាដែលពុទ្ធសាសនាផ្សាយតាមផ្លូវបណ្តោយទៅទិសពាយព្យដរាបលុះដល់ មធុរា ក្នុងស្រុកទាំងឡាយនេះ ដែលជាកន្លែងដើមនៃពុទ្ធសាសនា គឺពាដ្រឹះ បាតលីបុត្រ វៃសាលី ស្រាវស្តី អស់តាំងធម៌អាថ៌ទាំងឡាយបានសូត្រជាភាសាមគធ: ឯពួកសព្វាស្តិវាទិន សូត្រជាភាសាសំស្ក្រឹត ។ តម្រង់ទៅទិសពាយព្យទៅទៀត ពុទ្ធសាសនាក៏ផុតទៅត្រឹមកស្មីរនៅទីនោះ មានពួក

សព្វាស្តិវាទិនផ្សេង ១ ពួកទៀត គឺពួកមូលសព្វាស្តិវាទិន ដែលប្រហែលជាសម្តែងធម៌ត្រឡប់តាមគោលដើមវិញ(មូល)(១) ។

តាមផ្លូវមួយផ្សេងទៀត គឺផ្លូវដែលឆ្ពោះទៅត្រើយសមុទ្រនាទីដែលហៅថា ប៉ុម្បៃ សព្វថ្ងៃនេះ នោះពុទ្ធសាសនា បានតាំងនៅទីក្រុង ១ យ៉ាងល្អនៅកោសម្ពី នៅទីនោះមានបង្កើតសាលានៃពួកស្តវិរ ១ ដែលបោះបង់នូវភាសាប្រាក្រិត នៅលើមក និងសំស្ក្រឹតនៅ មថុរា ចេញ ហើយរើសយកភាសាបាលី មកដាក់ជាភាសាសម្រាប់ពុទ្ធសាសនាវិញ ។

X

X X

# បរិច្ឆេទទី ៤

# អំពីស្តេចអសោក

## ភាគទី ១

## អំពីជីវិតនៃស្តេចអសោក(២)

ក្សត្រិយ៍ ១០ ព្រះអង្គដែលគ្រងរាជសម្បត្តិ ជាដំណពើផ្សេសិសុនាគ

---

១- យើងមានសេចក្តីប្រែជាភាសាចិន វិន័យទាំងឡាយ របស់ពួកមហាសំឃិក មហីសាសកធម៌គុប្ត សព្វាស្តិវាទិន និងពួកមូលសព្វាស្តិវាទិន វិន័យនេះ អ្នកដំណើរចិនម្នាក់ឈ្មោះយិត្សិងដែលជាពួកនេះ បានប្រែចំណែកវិន័យខ្លះ នៃពួកមូលសព្វាស្តិវាទិន ជាភាសាសំស្ក្រឹតនោះ បានរក្សាទុកដល់យើងក្នុងទិវ្យាវទាន អំពីផ្សាយពុទ្ធសាសនា (មើលសៀវភៅព្រឹលុស្គី) អំពីរឿងមហាក្សត្រិយ៍អសោក បារីសឆ្នាំ ១៩២៣ ទំព័រ ៨ និងទំព័រតទៅទៀត ។

២- គោលដើម ទីបវំស មហាវំស អសោកាវទាន ( ក្នុងសៀវភៅដែលព្រឹលុស្គីតែង ) ទិវ្យាវទាន អំពីមហាក្សត្រិយ៍ អសោក អំពីប្រកាស ។

នោះ ក្សត្រិយ៍ទី ៥ ទ្រង់ព្រះនាមថាពិម្ពិសារ ក្នុងឆ្នាំ ៥៤០ ទៅ ៤៨៨ និងក្សត្រិយ៍ទី ៦ ទ្រង់ព្រះនាមថាអជាតុសត្រូវ ក្នុងឆ្នាំ ៤៨៨ ទៅ ៤៥៦ បានស្ថិតនៅក្នុងពុទ្ធកាល តពីនោះមកមានក្សត្រិយ៍ ៦ អង្គ គ្រងរាជសម្បត្តិដំណៅនៃស្តេចក្នុងនគរនោះ គឺឧសិក ១, ឧបាទាយិន ១, នន្ទិវធន ១ និង មហានន្ទិន ១ ក្សត្រិយ៍ខាងក្រោយនេះ ដោយបានយកនាងសូទ្រាជាភរិយា ក៏បានតាំងបង្កើតវង្សថ្មីតពីវង្សសូទ្រទៀត ដែលតមកបាន ២ ដំណៅមុខ គឺមហាបទ្មនិងបុត្រទាំង ៨ ដែលស្គាល់ឈ្មោះសារុបថានន្ទទាំង ៩ ឯប្អូនបង្អស់ក្នុងវង្សនេះ បានរាជ្យទៅចន្ទ្រគុប្តជាក្សត្រិយ៍នៅពួកមោរ្យ ដែលច្បាំងដណ្តើមបានកាលពីឆ្នាំ ៣១៥ មុនហើយហ៊ុំយគ្រិស្តតពីក្សត្រនេះ ពិន្ទុសារជាកូនឆ្នាំ ២៩១ ដល់ ២៦៦ និងអសោកនេះជាចៅ គ្រងរាជសម្បត្តិជាតំណអសោក បានជាក្សត្រមួយធំហើយ ជាអ្នកទំនុកបម្រុងពុទ្ធសាសនា ដោយព្រះចិន្តាស្ម័គ្រស្មោះមាំមួន ៗ ព្រោះហេតុនេះទើបរាជ្យក្សត្រនេះ មានរឿងរ៉ាវជាច្រើន ក្នុងរឿងរ៉ាវទាំងនេះជួនកាលក៏ពិបាកនឹងសំគាល់ នូវសេចក្តីពិតទីងសេចក្តីបំផ្លើស តែថាយើងមានភ័ព្វ មានសំណាងណាស់ ព្រោះយើងបានដឹងពង្សាវតារមួយជាប្រាកដណាស់ នៅក្នុងសិលាចារឹក ដែលអសោកឲ្យឆ្លាក់ទុក ដើម្បីរំឮកនូវហេតុកេរ្តិ៍ទាំងឡាយខ្លះ ដែលមានក្នុងអំណាចរបស់ខ្លួនផង ដើម្បីទូន្មានដល់អ្នករាជការ ឬដល់បណ្តាស្រ្តផង ។

សិលាចារឹកទាំងនេះមានចំនួន ៣២ កន្លែង ដែលជាចារឹកចាស់ជាង

គេ ក្នុងស្រុកឥណ្ឌា ជួនកាលឆ្លាក់នឹងផែនចេតិយ ជួនកាលលើផែនថ្មដា ហើយជួនកាល ក៏ឆ្លាក់លើសសរថ្មដែលដាំឡើងសម្រាប់ឆ្លាក់នូវចារឹកនេះ គេបានប្រទះឃើញមានច្រើនចារឹកទាំងឡាយ ក្នុងប្រទេសឥណ្ឌា តាំងពីបញ្ចាបខាងជើងដរាបដល់ម៉ៃសោខាងត្បូង ហើយតាំងពីឆ្នេរសមុទ្រខាងលិច ដរាបដល់បេងហ្គាល់ ពាក្យក្នុងចារឹកទាំងឡាយនោះជាពាក្យភាសាប្រាក្រិត ផ្សេងៗ បន្តិចពីគ្នា តាមដោយកន្លែង ឯចំណែកអក្សរមាន ២ ពួកមិនស្មើគ្នា គឺចារឹកខាងបញ្ចាប ( សាហ្គាគហ៊ិនិងមនស្សេរា ) នោះឆ្លាក់ជាអក្សរ ខរោស្ឋី ឯចារឹកឯទៀតទាំងឡាយក្រៅពីនេះ ឆ្លាក់ជាអក្សរព្រាហ្មី ។

ប្រកាស ទាំងឡាយរបស់អសោកនោះ មានឆ្លាក់ ជួនកាលតែឯង តាមបែបដូចមានខាងក្រោយ ។

ព្រះបាទអសោកបានគ្រងរាជសម្បត្តិប្រហែលជាក្នុងឆ្នាំ ២៦៦ មុនគ្រិស្តសករាជ ក្រោយពីនោះ ៤ ឆ្នាំមក ទើបតាំងអភិសេកក្នុងឆ្នាំ ២៦២ ក្សត្រិយ៍នេះគ្រងរាជ្យបាន ៣៧ ឆ្នាំហើយទិវង្គត ប្រហែលជាក្នុងឆ្នាំ ២២៨ មុនគ្រិស្តសករាជ ។

ពេលក្នុងរាជ្យព្រះបាទពិន្ទុសារជាបិតានោះ អសោកនៅជាមហាឧបរាជនៅស្រុក អវន្តិ ហើយតាំងព្រះដំណាក់នៅឧជ្ជយិនី អសោកបានយកធីតាស្រេស្ឋិន ១ នៅស្រុកវិទិសា ( ភិលស្ស ) នាមនាងទេវីជាភរិយា ហើយបានរាជបុត្រ ១ ឈ្មោះមហេន្ទ្រ និងធីតា ១ ឈ្មោះសំឃមិត្រា ដែលនៅមុខទៅ នឹងបានជាសាស្តាចារ្យនៅសីឡូន ( កោះលង្កា ) ។

| ភេទប្រសាទ | មាតិកា | ភាគទីយ៍ | និគម | កន្លែង | សេចក្ដីសម្គាល់ |
|---|---|---|---|---|---|
| ប្រកាស នៅលើថ្ម | | | ទាំ.ជោគទ | ប្រជុំខែត្រ មប្រក្សនិគម កន្ទួម | ប្រកាសពីរ ជាប់គ្នា ទៀត ១ (បោ)១-២០ ចារឹកចម្លង នៅជាលិ |
| | ១ (ប) | ប្រកាស នៅតាលិង្គ ៦ កន្លែង | ១ ជោលី | មើលខាងលើ | ១- ប្រកាស អំពីកិច្ចអ្នក ពងការដល់ មហាមាត្រ នៅតាសល ។ ២- ប្រកាស អំពីជាតិនៅ ប្រទេសផែន ដល់មនុស្ស ដផែល ។ |

| ភេទប្រសាទ | មាតិកា | ភាជនីយ៍ | និចម | កន្លែង | សេចក្តីសម្គាល់ |
|---|---|---|---|---|---|
| | | | ២ ដោគ៖ | មើលខាងលើ | ១.ប្រកាសអំពីជាតិនៅប្រទល់ដែនដល់មហាមាត្រនៃសមាធា ។ ២.ប្រកាសអំពីកិច្ចការដល់មនុស្សដដែល ។ |
| | គ-(ស) | ប្រកាសតូចពីរនៅលើថ្មរាបនៅកន្លែងទី២មានញកន្លែង | ១ បែរត៍ | ដេរ្សួគន (ទីក្រុង)ចម្ងាយ ១៩ គីឡូម៉ែត្រ ខាងលិចមធុក | ប្រកាសអំពីសេចក្តីខ្លះខ្លួន (បក-ក្រម)ចឡ្យ៉ិជាក្រោយ ២៥៦ ថ្ងៃនៃវិភស(ក-ជាតិសេក) |

| ភេទប្រសាទ | ក(អា) | ការជនិយ៍ | ទិសៈ | កន្លែង | សេចក្ដីសម្គាល់ |
|---|---|---|---|---|---|
| | | | | បណ្ដាបទិគម អម្ពាល | |
| | | | | | កំណាយគុហាដល់ពួកអាជីវក |
| | ៥ (ក) | ប្រកាស ៧ មាន ៦ កន្លែង | ១.ទេហ្លិ-តោប្រា ទេហ្លិសិវាលិក | | ប្រកាស ១-៧ នៅលើក្បាលសសរថ្មថ្មី |
| ប្រកាសដែលធ្លាក់នៅលើសសរថ្ម | | | ២.ទេហ្លិមិរត | ទេហ្លិ | ប្រកាស ១-៧(ក្បាលសសរជ្រុង) |
| | | | ៣.លោរិយាអរាជ(ឬមត្យាហ | មិហារ. ខាងជើងតំបន់ចប្បារេន | ប្រកាស១-៦ នៅលើក្បាលសសរជ្រុង) |
| | | | ៤.លោរិយានន្ទគឹ | ដូចគ្នាខាងលើ | ប្រកាស ១.៦(ក្បាល |

| ភេទប្រសាទ | មាតិកា | ភាជនីយ៍ | និគម | កន្លែង | សេចក្ដីសម្គាល់ |
|---|---|---|---|---|---|
| | | | | | ចែកជា ២) |
| | ៨(ហាស) | ប្រកាស នៅនេ ប៉ាល់ | រុម្មិន្ទី (ឬបទុ រិយ | ដូចគ្នាខាង លើចម្ងាយ ប្រហែល ២១ គីឡូ ម៉ែត្រខាង អគ្នេយ៍និ គមពស្តិ | បា (ក្បាល សសរជ្រុង) អសោក ស្ដេចទៅ មើលលុម្ពិនី ឧទ្យាន ក្បាលស សរមិនទាន់ ស្រេច ) |

លុះព្រះវរបិតាទិវង្គតទៅ អសោកចូលជាប្រញាប់ទៅក្រុងបាដលិបុត្រ ហើយដណ្ដើមយកកេរសម្បត្តិបានទៅវេលាដែល បានសម្លាប់បងប្អូនប្រុសទាំងអស់(១) ចាប់ដើមពីសុមនជាបងបង្អស់ ទុកតែប្អូនទៅម្នាក់ឈ្មោះតិស្ស (បា.តិស្ស) ឯប្រពន្ធសុមនក្នុងវេលានោះនាងទ្រង់គភ៌លុះប្រសូត

១ សេចក្ដីនេះប្រហែលជាខុសទេដឹង ដោយអសោកបាននិយាយ ក្នុងចារឹកអំពីបងប្អូនប្រុសស្រីខ្លួនជាមាននៅគង់អស់ ប្រកាសទី ៤,៥,៦ នៅលើផ្ទាំងថ្មប្រកាសទី ៧ នៅលើសសរ ប្រកាសអគ្គមហេសី ។

មកបានកូនប្រុស ១ ឈ្មោះទ្យគ្រោធ (បា.និគ្រោធ) ហើយតាមពង្សាវតារពួកសិង្ហលថា បានទូន្មានអសោកជាមាឲ្យចូលក្នុងពុទ្ធសាសនា ប៉ុន្តែដែលតាមពិតនោះថា បានចូលបួសនៅវេលាក្រោយ ដែលបានច្បាំងនៅស្រុកកលិង្គ (ឆ្នាំ ២៥៤ មុនគ្រិស្តសករាជ) អសោកបានសាស័ព្ទក្នុងប្រកាសទី ១៣ ថា ៖

ព្រះបាទសម្តេចព្រះទៅ បិយទសិ នៅវេលាក្រោយដែលបានគ្រងរាជ្យ ៨ ឆ្នាំ បានជ័យជំនះបានឈ្នះចម្បាំងស្រុកកលិង្គ បានចាប់ឈ្លើយបាន ១៥០.០០០ នាក់ បានសម្លាប់ ១០០.០០០ នាក់ ហើយដែលស្លាប់នោះជាច្រើនទៅទៀត តពីក់យស្រុកកលិង្គបានមក ព្រះអង្គមិនឈប់ទំនុកបម្រុងនូវធម៌ប្រតិបត្តិតាមធម៌ និងផ្សាយធម៌ឡើយ ។

លុះដើមអសោកគ្រាន់តែស្ម័គ្រចូលក្នុងពុទ្ធសាសនាជាឧបាសក លុះសេចក្តីជ្រះថ្លានេះចម្រើនឡើង ក៏បានចូលកាន់យកនូវសំលៀកបំពាក់ជាភិក្ខុគ្រាន់ជាឧបនិស្ស័យទៅមុខ "ក្នុងពេលជាង ២ ឆ្នាំ ខ្ញុនខ្ញុំធ្វើជាឧបាសកមិនខ្នះខ្នែងឲ្យពេញបរិបូណ៌ តាំងពីជាង ៦ ឆ្នាំហើយ ខ្ញុំបានបំពេញផ្សជាសង្ឃ ហើយខ្ញុំបានយកចិត្តទុកដាក់ជាច្រើន"

ក (អា) ព្រះបាទសម្តេចព្រះទៅបិយទសិ ១០ ឆ្នាំក្រោយពីអភិសេកបានយាងទៅកាន់កន្លែងដែលព្រះពុទ្ធបានបរមាសម្ពោធិញ្ញាណ បើដូចនេះ ព្រះបាទអសោកបានចូលកាន់ពុទ្ធសាសនា នៅវេលា ៩ ឆ្នាំ ក្រោយដែលបានរាជាភិសេក ២៥៤ ឆ្នាំមុនគ្រិស្តសករាជហើយបានបំពេញផ្ស

នៅក្នុងរាជ ដាច់ឆ្នាំ ទី ១១ (ឆ្នាំ ២៤២) ។

នៅឆ្នាំ ១៤ ក្រោយរាជាភិសេក (២៤៩) ព្រះអង្គបញ្ញត្តិប្រកាស ១៤ ច្បាប់នៅលើថ្ម និង ប្រកាសនៅប្រទល់ដែននៅឆ្នាំទី ១៨(២៤៥) ទ្រង់បានបញ្ញត្តិដល់សង្ឃ (ប្រកាសនៅកព) គឺក្នុងឆ្នាំនោះហើយ តាមពង្សាវតារពួកសិង្ហលថា ទ្រង់បានលើកតតិយសង្គាយនា (តែក្នុងចារឹកនានា មិនឃើញមានយោលសេចក្ដីឲ្យឃើញសោះ) ដោយអសោកនេះកាន់ពុទ្ធសាសនាយ៉ាងមាំណាស់ ក៏បណ្ដាលឲ្យមានពួកផ្សេង ៗ បន្ទំចូលផង ហើយពួកដែលបន្ទំទាំងនេះ ក៏ប្រព្រឹត្តបំពានដល់លក្ខណបញ្ញត្តិទាំងឡាយនៃព្រះវិន័យ ដើម្បីជាប្រយោជន៍ឲ្យបានត្រឹមត្រូវឡើងវិញ នោះបានគាំងលើកតតិយសង្គាយនាក្នុងគ្រានោះ សង្គាយនានេះបានធ្វើកំណត់ ៩ ខែ នៅក្រុងបាដលិបុត្រ នៅក្នុងអសោការាម ដោយមានតិស្សមោគ្គលិបុត្រថេរជាប្រធាន ដែលបានសម្ដែងនូវគម្ពីរកថាវត្ថុជាដំបូងបង្អស់គេ បានប្រកាសថា សាលាដែលសម្រាប់បង្រៀននូវពុទ្ធវិជ្ជាដ៏ប្រាកដ នោះគឺសាលាវិភជ្ជវាទិន ហើយដែលគេបានបណ្ដេញនូវពួកដទៃដែលចូលមកបន្ទំញាំញីពុទ្ធសាសនាចេញទាំងអស់ ។

វេលាដែលសង្គាយនាស្រេចហើយ បានចាត់ព្រះអរហន្តជាច្រើនឲ្យចេញទៅប្រទេសផ្សេង ៗ ដើម្បីផ្សាយពុទ្ធសាសនា គឺទៅគន្ធារ (បញ្ចាបខាងជើង) នោះគឺមជ្ឈន្តិក (បា.មជ្ឈន្តិកត្ថេរ) ទៅមហិមណ្ឌល (មីសោរ) គឺមហាទេវថេរ ទៅវនវាស (កនរ) គឺរក្ខិត (បា.រក្ខិតត្ថេរ) ទៅអបរន្ត

(ពុជគេខាងជើងកប្បេរនិងសិន្ធុ) គឺធម៌ក្សេត្រយវន (យោនកធម្មក្ខិតត្ថេរ) ទៅមហារាស្ត្រ (បា.មហារដ្ឋ) គឺឥណ្ឌាកណ្តាល គឺមហាធម៌ក្សេត្រទៅប្រទេសនៃពួកយវន (យោនកលោក) យោនវិសយ (អហ្វយនិស្តង់) គឺមហារក្ខិត ទៅក្នុងនិគមមហិមាលយា ជម្យម (មជ្ឈិម) គឺសហទេវ និងមូលកទេវ ដោយមានទុន្ទុភិស្សរ (ទុន្ទុភិស្សរ) ទៅជាមួយផង ។

ទៅសុវណ្ណភូមិ (ស្រុកមន) គឺសោណ និង ឧត្តរត្ថេរ ទៅលង្កា (សិឡូន) គឺមហិន្ទ ជាបុត្រអសោក សេចក្តីពិត អំពីការបាត់បែងព្រះអរហន្តទាំងឡាយនោះ មានកំណត់ដោយគោដ្ឋ ៣ ដែលគេឃើញនូវសោនរ៍ (កិស្ស) មួយអន្ទើនិងចារឹកដែលមានសញ្ញាចុះនាមអរហន្ត ដែលមានអដ្ឋិ (ឆ្អឹង) ក្នុងគោដ្ឋ នោះផង ។

១. សប្បុរិសគោតីបុត្តសហេមវតសទទកិសា ទាយាទស "ឆ្អឹងនៃព្រះអរហន្តគោតីបុត្រនៅហិមាលយ ដំណរទទកិសរ"

២. សប្បុរិសគោតីបុត្តកាសបគោត្តសសរ ហេមវតាចរិយស "អដ្ឋិនៃព្រះអរហន្តគោតីបុត្រជាត្រកូលកាសប ហើយជាសាវកត្រូវគួរទៅក្នុងនិគមមហិមាលយោ" ។

៣. សប្បុរិស មជ្ឈិមសគោទិនិបុត្តស "អដ្ឋិនៃព្រះអរហន្តមជ្ឈិមគោទិនិបុត្រ" ។

ដូចនេះឃើញថាគោដ្ឋទាំងនេះ ប្រាប់សេចក្តីពិត ក្នុងរឿងរ៉ាវនៃអរហន្ត ២ អង្គ ដែលជាអ្នកធ្វើតតិយសង្គាយនា ។

ទទកិសរ ( គឺ ទន្ទកិសុរ ) ហើយឯមជ្ឈិមគោទិនិបុត្រ ( គឺ មជ្ឈិម គោទិនិបុត្រ ) គោដ្ឋភាំងនេះប្រាប់ដល់យើងថា ព្រះអរហន្តទី ១ បាន ផ្សាយធម៌អាចិទ្ធទៅក្នុងទិគម៌ហិមាលយា ហើយឲ្យយើងដឹង ម្យ៉ាងទៀត ថាព្រះអរហន្តនោះមានអ្នកតំណាងតទៅ ១ អង្គទៀតនាមថា កាស្សប គោតីបុត្រ ។

ឯមហាក្សត្រិយ៍ ដើម្បីបញ្ចេញឲ្យឃើញថាព្រះអង្គមានសេចក្តីជ្រះថ្លា យ៉ាងនាំនោះ បានសាងស្តូបជាច្រើន មានចំនួនដល់ ៨៤.០០០ (តាម ដែលមាននិពានក្នុងរឿងរ៉ាវ ) ហើយបានបញ្ចុះសារីរិកធាតុទាំងប៉ុន្មាន ដែលដកយកអំពីស្តូបធំៗ ទាំង ៨ ដែលបានបញ្ចុះជាដំបូង ឬដកយកអំពី ស្តូបតែមួយ ដែលព្រះបាទអជាតសត្រូវបានប្រមូលពីស្តូបទាំង ៨ មក(១) គឺប្រហែលជាស្តូបមួយ បណ្តាស្តូបទាំងឡាយនេះ ដែលគេបានរកឃើញ នៅបិប្រាហ៍ លើព្រំប្រទល់ដែនទេប៉ាល់ ស្តូបនោះមានកោដ្ឋមួយ នៅ ក្នុងនោះហើយ មានអ្នកតូចៗខ្លះ ក្នុងកោដ្ឋនោះផង នៅលើគ្របកោដ្ឋ នោះ ឃើញមានអក្សរ ព្រះបាទអសោក ចារឹកថាដូច្នេះ ៖

សុកិតិ ភតិនំ សភគិនិកានំ សបុតទលនំ ឥយំ
សលិលនិធានេ ពុទ្ធស ភគវតេ សាកិយានំ ។

កន្លែងដាក់ឆ្អឹងសារីរិកធាតុព្រះពុទ្ធ ជាត្រកូលសាក្យនេះ ជាការ ទ្រទ្រង់សាសនា ១ នៃបងប្អូនសុកិតិមួយអន្លើនឹងបងប្អូនស្រី និងបុត្រប្រុស និងភរិយា ។

---

១- តាមគម្ពីរ ពុទ្ធបរិយាសិត

ក្នុងឆ្នាំទី ២១ ក្រោយរាជាភិសេក ព្រះបាទអសោកបានយាត្រាទៅកាន់កន្លែងដ៏ប្រសើរទាំងឡាយ ហើយយកភិក្ខុ ១ អង្គ ដែលមានឥទ្ធិឫទ្ធិនាមថាឧបគុប្តនៅមថុរានាំមុខទៅ ព្រះអង្គបានទៅមើល នៅលុម្ពិនីឧទ្យានជាដំបូងដែលជាកន្លែងព្រះសម្ពុទ្ធប្រសូត ហើយបានលើកសសរថ្មចារឹកជាប្រកាស ១ នៅទីនោះ ដែលយើងឃើញនៅលុះសព្វថ្ងៃនេះនៅរុម្មិន្ទីបុបវរិយក្នុងនិគមភស្តិ លើព្រំដែននេប៉ាល់(១) ព្រះអង្គបានយាងទៅចម្ងាយ ២ ឬ ៣ យោជន៍ទៀត ទៅខាងលិច ហើយថ្វាយបង្គំព្រះស្តូបនៃព្រះពុទ្ធកោនាគមន (កនកមុនី) ដែលព្រះអង្គបានពង្រីកឲ្យធំតាំងពី ៦ ឆ្នាំមុននោះមក ហើយបានលើកសសរថ្ម ១ ចារឹកសេចក្តីប្រកាសនៅទីនោះ ដែលគេបានឃើញកាលពីឆ្នាំ ១៨៩៥ នៅនិគ្លីវ ហើយដែលមានចារឹកថាដូច្នេះ ។

១- ទេវានំបិយេន បិយទសិនា លាជិនចោទសវសាភិសិតេន ។

២- ពុទ្ធសកោនាគមនស ថុបេទុតិយំវឌ្ឍិតេ ។

៣- វីសតិវសាភិសិតេន ចអតន អាគាចមហិយិតេ ។

៤ សិលាថភេចឧសបាបិតេ ។

ព្រះបាទសម្តេចព្រះចៅបិយទសិ នៅវេលាដែលបានអភិសេកឡើងគ្រងរាជសម្បត្តិបាន ១៤ ឆ្នាំ បានពង្រីកឲ្យធំជាគម្រប់ ២ ដង នៃស្តូបព្រះពុទ្ធកោនាគមន លុះរាជាភិសេកបានកំណត់ ២០ ឆ្នាំ ព្រះអង្គ

---

១. មើលសៀវភៅ សោប្រ ចំពូក ២ ។

ស្ដេចទៅថ្វាយបង្គំនមស្ការនូវព្រះចេតិយនេះដោយព្រះអង្គឯងហើយ លើកនូវសសរថ្មនោះផង ។

បារឹកតាំងឡាយរបស់អាសោកឲ្យយើងដឹងថា ព្រះអង្គបានសង់នូវវេជ្ជស្ថាន គឺពេទ្យរក្សាជម្ងឺជាច្រើន ហើយបង្គាប់ឲ្យដាំដើមឈើសម្រាប់ធ្វើថ្នាំផង បង្គាប់ឲ្យជីកអណ្ដូងនិងដាំដើមឈើផ្សេង ៗ មិនត្រឹមតែអាណាខេត្រព្រះអង្គឡើយ បានតាំងផ្សាយឫសទៅដល់នគរជិត ៗ ទៀត មាននគរចោឡ (គឺ កន្ទិបុរម) ១, នគរបាណ្ឌ្យ (គឺជ្រោយខាងត្បូង) ១, នគរសត្យបុត្រ ១, នគរកេរលបុត្រ (គឺត្រើយនៃម៉ាឡាបារ) ១, នគរតម្ពបណ្ណិ (គឺសីឡង់) ១, (ប្រកាសអា ១-២៣) ព្រះអង្គផ្សាយនូវសីលដែលជះឆ្ងាយទៅទៀត ប្រសិនបើគេជឿសេចក្ដីប្រកាសទី ១៣ របស់ព្រះអង្គដែលមានសេចក្ដីថា ៖

"នេះហើយជ័យជំនះដែលព្រះអង្គឈ្នះ គឺជ័យជំនះដោយធម៌ ជ័យជំនះនេះហើយ ដែលព្រះអង្គបានឈ្នះនៅទីនេះ និងនៅក្នុងប្រទេសជិតខាងចម្ងាយស្មើនឹង ៦០០ យោជន៍នៅទីនោះ ហើយដែលអន្តិយោកជាក្សត្រិយ៍នៃយោនកគ្រងរាជ្យទៅ ហើយផុតពីដែនរបស់អន្តិយោកនេះទៅមានក្សត្រិយ៍ ៤ អង្គទៀត គឺតុរមយ ១, អន្តិកិនិ ១, មក ១, អលិកសុទន ១ ចំណែកខាងត្បូងមានប្រទេសចោឌ ប្រទេសបណ្ឌដរាបដល់តម្ពបណ្ណិ ហើយនៅទីនេះទៀតក្នុងអាណាខេត្រព្រះអង្គ គឺពួកយោន កម្ពោជ

នាភក នាភតិ ភោជ បិតិនិក អន្ធ្រ បុលិន្ទ ក៏ទៅតាំងតែគេកាន់តែប្រតិបត្តិ ធម្មានរបស់ព្រះអង្គ(១) ។

ឆ្នាំក្រោយបំផុតដែលពិតរបស់អសោកនោះគឺ ឆ្នាំទី ២៨ (២៣៧) ឆ្នាំនោះហើយស្ដេចបានលើកប្រកាស ៧ លើសសរថ្ម យើងនឹងបញ្ចប់ ពង្សាវតារអសោកដោយរឿងការ ២ ដែលដកយកមកពីអសោកាវទាន ជាដូច្នេះ ។

ព្រះបាទអសោកបានបុត្រប្រុស ១ ពីនាងអសន្ធិមិត្រជាអគ្គមហេសី ថ្វាយព្រះនាមថា កុណាល លុះព្រះអគ្គមហេសីអស់ព្រះជន្មទៅព្រះអង្គក៏ យកនាងតិស្សរក្សិតាដែលជាស្រីមានមាយាកាឡកិណ្ណី ហើយតម្កល់ ឡើងជាអគ្គមហេសី នាងនោះទៅស្រឡាញ់ កុណាលរាជកុមារដោយ តែព្រះរាជកុមារមិនព្រមហើយស្ដីប្រដៅផង ឲ្យមកវិញនៅវេលាដែលនាង នេះធ្វើនូវកលមាយាទៅឲ្យ នាងតិស្សរក្សិតាចងចិត្តព្យាបាទ ហើយ ក៏តាំងបង្វែរកុណាលពីក្នុងកំផែងបញ្ជូនទៅ ដោយប្រគល់រាជការស្រុក តក្កសិលាឲ្យ រួចពីនោះមក ដោយដឹងថាព្រះបន្ទូលទាំងឡាយរបស់ស្ដេច

១- អន្តិយោក (គឺអន្តិយោគុះថេអូសជាស្ដេចនៅស៊ីរី ឆ្នាំ ២៦១-២៤៦ មុនគ្រិស្តសករាជ) តុរមយ គឺប្តូលេម៉េ ហ្វីឡាដិល្ហ ជាស្ដេចនៅអេហ្ស៊ីប (ឆ្នាំ ២៨៥-២៤៧) អន្តិកិនិ គឺអន្តិកោនេ គោនត ជាស្ដេចនៅម៉ាសេដ្វាន (២៧៦-២៣៩) មក គឺមកនៅស៊ីរែន (ប ៣០០-២៥០) អលិកសុទរ គឺអឡិចសង់ឌ្រ នៅអេពី (២៧២-២៥៨) ឬអឡិចសង់ឌ្រនៅកោរិន្ធ (២៥២-ប.២៤៤) ចូឌយោន គឺចូឡក្រិកនៅបញ្ជូប ចូឌកម្ពោជ គឺចូឌដែលនៅខាងទិសពាយព្យ ចូក អន្ត្រ កាលដើមនៅឆ្នេរសមុទ្រខាងកើត ជាខាងត្បូងស្រុកកលិង្គ ឯជាតិឯទៀតនោះ មិនប្រាកដ ។

ដែលនឹងត្រូវយកជាការបាននោះ ត្រូវតែមានបោះត្រានឹងព្រះទន្ត ម៉្លោះ ហើយនាងនោះយកសំបុត្រដែលបានបិទមាត់ស្រោម ដោយអាចម៍ល័ក្ក ដែលសរសេរនឹងដៃឯង ទៅផ្ដិតយកម្រាមព្រះទន្ត ក្នុងឱកាសដែល ស្ដេចទ្រង់ផ្ទុំស្កល់ ធ្វើទៅដល់មន្ត្រីខត្តនៅតក្កសីលា លុះមន្ត្រីទាំងនោះបានបើកបណ្ណលិខិតនោះឡើងបានឃើញព្រះរាជអាជ្ញាបង្គាប់ ដោយដាច់ស្រេចថា ឲ្យឆ្កៀលព្រះនេត្រព្រះរាជកុមារទាំង២ខាងហើយបំបរបង់ទៅក្នុងគុម្ពមួយអន្លើនឹងភរិយា បំណែកឯសេនាមុខមន្ត្រីទាំងនោះ ចង់បង្អង់សិនមិនសម្រេចតាមព្រះរាជអាជ្ញានោះ ក៏ខ្លួនព្រះរាជកុមារឯងបានបង្គំឲ្យគេបាត់ការសម្រេចតាមព្រះរាជអាជ្ញាមួយរំពេច លុះវិនាសចក្ខុប្រសាទនោះទៅវេលាណាហើយ កុណាល ក៏ស្ដេចចេញទៅជាមួយនឹងភរិយា ហើយត្រឡប់ចូលទៅបាដលិបុត្រវិញ ដើរចូលទៅក្នុងរាំងហើយច្រៀងទំនុក ១ ដេញពិណបន្ទរផង ឯមហាក្សត្រិយ៍នឹកស្មានក្នុងព្រះហឫទ័យថា ដូចជាសម្លេងរាជបុត្រព្រះអង្គ ហើយក៏មានព្រះបន្ទូលឲ្យនាំអ្នកចម្រៀងនោះចូលទៅ លុះបានស្គាល់ជាក់ជាព្រះរាជបុត្រព្រះអង្គហើយ ក៏ស្រយុតក្នុងព្រះរាជហឫទ័យកើតក្ដៅក្រហាយក្នុងព្រះឧរា ឯនាងតិស្សរក្សិតានោះក៏ព្រះអង្គឲ្យដុតទាំងរស់ហើយឯបណ្ដាមនុស្សទាំងឡាយឯណាដែលបានចូលដៃ ក្នុងការប្រព្រឹត្តធ្វើទោសក្នុងបទឧក្រិដ្ឋនោះ ក៏ស្ដេចឲ្យធ្វើទោសដល់ជីវិត ឬបំបរបង់ចេញទាំងអស់ លុះក្រោយនោះបន្តិចមក កុណាល ក៏បានមានចក្ខុប្រសាទឡើងវិញគួរជាអស្ចារ្យ ។

មហាក្សត្រិយ៍បានប្តេជ្ញាថា  នឹងធ្វើទានដល់ព្រះសង្ឃឲ្យអស់ចំនួនប្រាក់មាស ១០០ កោដិ លុះព្រះអង្គទ្រង់ព្រះជរាទៅបានធ្វើអស់តែត្រឹម ៩៦០.០០០.០០០ ដើម្បី នឹង ធ្វើឲ្យគ្រប់ចំនួនដែលបានប្តេជ្ញាហើយមុនទិវង្គតនោះព្រះអង្គបានផ្ញើ ប្រាក់ និង មាសជាច្រើន តែរាល់ ៗ ថ្ងៃទៅកុក្កុដារាម សេនាមន្ត្រីទាំងឡាយ ដោយយល់ថានឹងបណ្តោយឲ្យព្រះអង្គធ្វើខ្ជះខ្ជាយនិងវិនាសរាជសម្បត្តិ  ហើយក៏ថ្វាយដំណឹងដល់ព្រះរាជកុមារជាព្រះរាជបុត្រ កុណាល ព្រះរាជកុមារនោះ បានហាមដល់នាយឃ្លាំងកុំឲ្យសម្រេចតាមព្រះរាជឧង្ការឡើយ  ឯអសោកក៏យកចានមាសប្រាក់ទៅធ្វើជាទាន រួចពីនោះមក លុះអស់លើងពីព្រះអង្គ ព្រះអង្គផ្ញើផ្លែអាមលក (ស្រម៉) ១ ចំហៀងទៅប្រគេនព្រះសង្ឃនៅកុក្កុដារាម ហើយសូមឲ្យព្រះសង្ឃទទួលថាជាទានក្នុងទីបំផុត  ជារបស់មហាក្សត្រិយ៍អសោកតពីនោះមកហើយព្រះអង្គក៏ទទួលទិវង្គតរំលាងខន្ធទៅ ។

X

X X

# ភាគទី ២

## អំពីប្រការនៃអរសោក

ក្រៅពីកិច្ចការផ្ទាល់ព្រះអង្គដែលបានស្រង់សេចក្ដីដូចមានខាងលើនោះ សេចក្ដីក្នុងប្រកាសនៃក្បួនត្រៃយ៍នេះ នឹងរៀបចែកជា ៣ មេបាន គឺ ការប្រតិបត្តិនូវធម៌ ការរៀងការ និង ពុទ្ធសាសនា ។

## អំពីការប្រតិបត្តិនូវធម៌

សេចក្ដីជាប្រធានក្នុងប្រកាសទាំងអម្បាលនេះ គឺសម្ដែងនូវធម៌ ដែលហៅថាធម៌នោះត្រូវយល់ថាមិនត្រឹមតែធម៌ព្រះអង្គឡើយ គឺជាវត្តប្រតិបត្តិដែលគេកាន់កាន់ក្នុងលោកនេះ ។

ប្រកាសទី ២ នៅសិទ្ធបុរ (១ ៤) នេះមានសេចក្ដីសង្ខេបដូច្នេះ :

មាតាបិតុសុសុស្សូសិតវិយ

បោមេវគរុត្តំ ព្រាខេសុព្រហ្មចរិយំ

សង់ វតរីយំ

សេវមេ ឧម្មកុណា បវតិតវិយា

បោមេវ អគ្គិសិខា គពិវយ អបចាយិតវិយេ

ញាតិគោសុ ចតុយបារបាំ បវតិតវិយេ ឯសា គោក

ណាបត្តិ និយា ភាសេ តបោរំ ឯសគតដវិយេ ច ។

ត្រូវស្ដាប់បង្គាប់នៃមាតាបិតា :

ត្រូវញុំាងចិត្តឲ្យកោតខ្លាចដល់សត្វមានជីវិត (អាណិតសត្វ)
ត្រូវនិយាយដោយពាក្យសច្ច (ពាក្យទៀង)
នេះហើយជាលក្ខណធម៌ដែលគួរប្រតិបត្តិ ។

ម្យ៉ាងទៀតសិស្សត្រូវគោរពប្រតិបត្តិដល់គ្រូអាចារ្យ ហើយចំពោះនិងញាតិសន្តានត្រូវប្រព្រឹត្តតាមថ្នាក់ខ្ពស់ទាប នេះហើយជាវត្តប្រតិបត្តិដែលមានពីបូរាណមក វត្តប្រតិបត្តិនេះជាធម៌ចម្រើននូវអាយុឲ្យវែងដូច្នេះ ត្រូវតែកាន់យក ត្រូវតែប្រតិបត្តិ ។

ក្នុងប្រកាសទី ២ នៅសសរថ្ម (ហ្វូ ២) អសោកអធិប្បាយពីធម៌ថា :

ធម្មេ សាធូ កាយំ ចុធម្មេតិ អបាសិនវេ ពហុក-
យានេ ទយា ទានេ សចេ សោចយេ ចខុ ទានេ បិ មេ ព-
ហុវិធេ ទិន្នេ ទុបទចតុបទេសុ បក្ខិវាលិចលេសុ វិ-
វិធេ មេ អនុគហេ កដេ អាបានទាខិណាយេ អំនានិបិច-
មេ ពហូនិ កយានានិ កដានិ ។

" ធម៌ជារបស់ ១ ដ៏ល្អ ប៉ុន្តែអ្វីជាធម៌ គឺបាបតិចបុណ្យច្រើន, មេត្តា, សប្បុរស, សុចរិត, បរិសុទ្ធ, ខ្ញុំយើងបានធ្វើទានគ្រប់ចំពូកទាំងអស់ដល់សត្វទ្វេបាទ, ចតុបាទ, បក្សី, មច្ឆា យើងបានផ្សាយនូវសេចក្តីអនុគ្រោះជាច្រើនដរាបដល់ឲ្យទាននូវជីវិត ហើយយើងបានធ្វើនូវកិច្ចការដ៏ប្រសើរជាច្រើនទៅទៀត ក្នុងប្រកាសតទៅទៀត (ហ្វ.៣)

ព្រះអង្គទូន្មានឲ្យគិតថា គេឃើញតែធ្វើអំពើល្អរួចនឹកថា អញបានធ្វើអំពើនេះល្អ រីឯផ្លូវអាក្រក់ដែលគេធ្វើនោះ មិនបានឃើញផង គេមិននឹកថា អញធ្វើអំពើលាមកនេះហើយជាទោស ពិតមែនតែសេចក្ដីពិចារណានេះជាទីលំបាក ប៉ុន្តែគួរគប្បីប្រយ័ត្នដល់ផ្លូវនេះកុំភ្លេចឡើយ ហើយគិតថា " ហេតុនេះ ហេតុនោះជាទោស គឺដូចជាទោសកាចសាហាវ កំហឹង មានះប្រណែន ដែលបណ្ដាលឲ្យខ្លួនអញខូចខាត គួរគប្បីប្រយ័ត្ននឹងផ្លូវអស់នេះ នេះហើយជាសម្បត្តិអញដ៏វិសេស ក្នុងនាលោកិយ និងក្នុងបរលោក ព្រះមហាក្សត្រិយ៍ទ្រង់សំដៅសេចក្ដី ១ នេះជាមាំ គឺថាប្រតិបត្តិធម៌ តែដោយខ្លួនម្នាក់ៗ មិនល្មមបរិបូណ៌ទេត្រូវតែផ្សាយធម៌នោះទៅអ្នកដទៃផង ។

"គ្មានទានឯណាស្មើនឹងទានធម៌ឡើយ(១) គ្មានមិត្តឯណាស្មើដោយមិត្តនិងធម៌ឡើយ គ្មានចំណែកអ្វីស្មើនឹងចំណែកធម៌ឡើយគ្មានញាតិឯណាស្មើដោយញាតិនិងធម៌ឡើយ ធម៌នេះ គឺដូច្នេះអាណិតដល់បាវព្រាវខ្ញុំកំដរ ស្ដាប់បង្គាប់មាតាបិតា ចិត្តល្អដល់មិត្តសម្លាញ់ញាតិសន្ដាន ស្រមណ៍និងព្រាហ្មណ៍កោតខ្លាចដល់ជីវិតសត្វ បិតា ប្ដីបុត្រនិងបងនិង មិត្រសម្លាញ់និងអ្នកជិតខាង គួរតែពោលថានេះល្អ នេះគួរធ្វើ ដែលប្រព្រឹត្តដូច្នេះនឹងឃើញប្រយោជន៍ក្នុងជាតិនេះ និងក្នុងជាតិខាងមុខ និងបានផលជាអនេកដោយអំណាចធម្មទាននេះ (ប្រកាសលើដុំថ្ម អា ១១) ។

---

១- នាស្តិឯតារិសំទានំយារិសំធម្មទានំ

ត្រូវធ្វើដូចម្តេចឲ្យបានចម្រើនក្នុងផ្លូវធម៌ គឺដោយគ្រង់គ្រាប់ធ្វើតាមច្បាប់ប៉ុន្តែត្រូវធ្វើដោយសេចក្តីពិចារណាគ្រប់អន្ទើ (ហ្វ. ៧) ។

កិរិយាចម្រើនឡើងនៃធម៌មាន ២ យ៉ាងគឺដោយសេចក្តីបញ្ញត្តិនៃធម៌និងដោយពិចារណា (និវត្តិ), សេចក្តីបញ្ញត្តិនោះជាបន្ទាប់បន្សំ ឯសេចក្តីពិចារណានោះ ជាធំ សេចក្តីបញ្ញត្តិនៃធម៌ គឺឧបមាដូចជាសេចក្តីបញ្ញត្តិដែលខ្ញុំបានប្រកាស ដោយហាមថាសត្វណា ៗ ខ្លះ ដែលមិនត្រូវឲ្យសម្លាប់ ហើយនឹងរបៀបច្បាប់ផ្សេង ៗ ឯទៀតដែលខ្ញុំបានបញ្ញត្តិហើយ ប៉ុន្តែឯហេតុដើមគឺសេចក្តីពិចារណា ដែលនឹងធ្វើឲ្យចម្រើនឡើងនៃធម៌របស់មនុស្សដើម្បីចៀសវាងមិនបំផ្លាញដល់សត្វនិងមិនសម្លាប់សត្វ ។

ចុះអ្វីដែលជាផលនៃសេចក្តីប្រតិបត្តិផ្លូវធម៌ គឺប្រយោជន៍ក្នុងលោកនេះនិងលោកខាងមុខ (ហិទតបលតេអាលធហោតិ)(១ ក្នុងលោកនេះគឺបានអាយុវែង (២) ក្នុងលោកខាងមុខគឺស្ថានសួគ៌(៣) គ្មាននិយាយពីព្រះនិព្វានឡើយ ។

សេចក្តីបញ្ញត្តិទាំងនេះ ព្រមទាំងផលនៃសេចក្តីខ្នាននេះ មិនមែនជាផ្លូវពុទ្ធសាសនាឡើយ ប៉ុន្តែប្រហែលត្រូវលើកតែស្ថាន ១ គឺត្រង់សេចក្តីដែលថាមិនឲ្យធ្វើបាបដល់សត្វមានជីវិត ស្ថាននេះមានសម្ពន្ធនៅក្នុង

---

១- សេចក្តីអធិប្បាយ អា ១១ ភាគទី ៧

២- ប-២

៣- អា ៦-៩-១០.១៣.ប.១; ប.១; ហ្វ.៥,៧,

សេចក្តីប្រដៅរបស់អសោកជាមាំមួន ហើយដែលពិតប្រាកដជាចេញមក ពីពុទ្ធសាសនា ដើម្បីនឹងកត់ទុកក្នុងចិត្តនៃបណ្តាក្សត្ររបស់ព្រះអង្គ ទាំងអស់ឲ្យបានមាំមួននោះ ព្រះអង្គយកខ្លួនព្រះអង្គឯងធ្វើជាគំរូ (អា ១) ។

" កាលពីដើមក្នុងរោងវិសេស ដែលធ្វើក្រយាស្ងោយថ្វាយព្រះអង្គនោះ គេតែងសម្លាប់សត្វក្នុង ១ ថ្ងៃ ៗ ចំនួនជាច្រើនរយពាន់ ធ្វើក្រយាស្ងោយថ្វាយព្រះអង្គ ឥឡូវនេះគេសម្លាប់តែ ៣ វិញ គឺក្ងោក ២ និងឈ្លូស ១ ហើយឯឈ្លូសនោះមិនជាសម្លាប់ញឹកញយទេ ឯសត្វទាំង ៣ នេះទៀត ទៅមុខទៅនឹងខានសម្លាប់សោះ" ។

ក្នុងប្រកាស ១ ទៀត (ប្ហ.៥) ព្រះបាទអសោកហាមផ្តាច់មិនឲ្យសម្លាប់សត្វជើង ៤ ដែលជាសត្វមិនសម្រាប់អាហារ ឬ ជាសត្វមានប្រ-យោជន៍ ព្រះអង្គផ្សាយនូវអាជ្ញាដល់សត្វមានប្រយោជន៍ ព្រះអង្គផ្សាយនូវអាជ្ញាដល់សត្វខ្លះដែលជាសត្វសម្រាប់អាហារផង ដូចជាក្ងាន់ កំប្រុក, ជ្រឹង, រមាស, សេក; ក្ងោក, ក្ងាន, ត្រាយ ។ល។ ខាងក្រោមនេះព្រះអង្គដាក់កម្រឹតដូច្នេះ ។

„ សត្វពពែញី ចៀមញី និងជ្រូកព្រៃញី ប្រសិនបើវាមានកូននៅក្នុងពោះ ឬ កំពុងបំបៅកូន នឹងម្លាប់មិនបាន ព្រមទាំងកូនសត្វទាំងនេះផង ដរាបដល់អាយុ ៦ ខែ ។

សត្វមាន់ឈ្មោលនិងក្រៀវមិនបាន ហាមផ្តាច់មិនឲ្យដុតស្មៅស្ងួតដែលមានសត្វមានជីវិតនៅ ៗ ក្នុងនោះ ហាមផ្តាច់មិនឲ្យដុតភ្លើងព្រៃ

ដោយចិត្តអាក្រក់ ឬ ដោយបំផ្លាញដល់សត្វមានជីវិត ដែលនៅក្នុងព្រៃនោះឡើយ ។

“ រូបមានជីវិតមិនត្រូវយករូបមានជីវិតជាអាហារឡើយ ” ។

## អំពីការរាជការ

អសោកបានបង្កើតបែបថ្មីក្នុងរបៀបរាជការ តាំងពីកល្បមុន ៗ មក ទល់នឹងកល្បព្រះអង្គនោះម្ចាស់ផែនដីត្រូវមានពេលម៉ោងខ្លះក្នុង ១ ថ្ងៃ ១ នឹងពិនិត្យរឿងរ៉ាវ ឯអសោកវិញគម្រូវថាការទាំងឡាយ ត្រូវយកចូលទៅថ្វាយព្រះអង្គពិនិត្យបានគ្រប់ពេលទាំងអស់ និងគ្រប់ទីកន្លែងដែលព្រះអង្គសំណាក់ ។

អ.៦ “ កាលពីដើមការទាំងឡាយដែលនាំចូលទៅ ព្រមទាំងសេចក្តីនាំការទូលធ្វងមិនបានធ្វើគ្រប់ពេលឡើយ នេះនៃដែលយើងបានធ្វើគ្រប់ពេលទាំងអស់ វេលាដែលខ្ញុំនៅក្នុងកន្លែងសោយក្តី កន្លែងក្រសាលក្តី ក្នុងក្រឡាបន្ទំក្តី ក្នុងរាជរថក្តី ឬ ក្នុងសួនក្តី អ្នកយកសេចក្តីក្រាបទូលថ្វាយដំណឹងដល់ខ្ញុំ អំពីរឿងរ៉ាវទាំងឡាយរបស់បណ្ដារាស្ត្រហើយគ្រប់កន្លែងទាំងអស់ ខ្ញុំត្រូវសម្រេចសេចក្តីនៃរឿងរ៉ាវរបស់បណ្ដារាស្ត្រ ការងាររបស់ខ្ញុំមានតែ ១ ដែលជាប្រយោជន៍ល្អទូទៅ គឺសេចក្តីឧស្សាហ៍ និងសម្រេចកិច្ចការផែនដីជាបុស ព្រោះគ្មានអ្វីទៀតដែលជាប្រយោជន៍ទូទៅនោះឡើយ ចុះហេតុអ្វីក៏ខ្ញុំខំប្រឹងដូច្នេះ គឺដើម្បីឲ្យរួចខ្លួនខ្ញុំពីបំណុលអំពីសត្វមានជីវិតខ្ញុំ សូមឲ្យសត្វទាំងឡាយបានសេចក្តីសុខសប្បាយក្នុង

លោកនេះ ដល់ទៅក្នុងលោកខាងមុខខ្ញុំសូមឲ្យសត្វទាំងនេះបានទៅកើតក្នុងស្ថានសួគ៌ ។

ព្រះរាជបញ្ញត្តិរបស់អសោកដែលបញ្ញត្តដល់អ្នករាជការនោះ ជូនកាលបញ្ញត្តផ្ទាល់ចំពោះព្រះអង្គ ជូនកាលបង្គាប់ឲ្យស្ដេចឧបរាជ ២ អង្គនៅស្រុកតក្សសិលា និង ឧជ្ជយិនី បញ្ញត្តជំនួសព្រះអង្គ ឯពួកមន្ត្រីជាន់ខ្ពស់ ៗ មានងារធម្មតាហៅថាមហាមាត្យ មន្ត្រីជាន់បន្ទាប់មានងារជាយុក្តហៅក្រសួងរាជការរដ្ឋបាលនៅខេត្តក្រៅហៅថា រជុក ឯហៅក្រសួងទាំងនោះ មានអ្នករាជការដែលនៅក្នុងបង្គាប់ហៅថាប្រាទេសិក គឺក្រុមព្រះឃ្លាំងនិងក្រុមកងក្រវែល មន្ត្រីទាំងនេះត្រូវដើរត្រួតត្រាពាល់តែ ៥ ឆ្នាំ គឺ ៥ ឆ្នាំម្តង (អនុសំយាន) ក្នុងតំបន់ខេត្តដែលឡើងខ្លួន ហើយក្នុងឱកាសនោះ ត្រូវពន្យល់ដល់បណ្ដាប្រជារាស្ត្រអំពីលក្ខណៈនៃធម៌ទាំងឡាយ គឺស្ដាប់បង្គាប់មាតាបិតា ធ្វើចិត្តឲ្យល្អ សង្គ្រោះដល់មិត្តសម្លាញ់ ដល់ញាតិ ដល់ព្រាហ្មណ៍និងស្រមណ៍ ត្រូវកោតខ្លាចជីវិតសត្វសំខាន់ក្នុងការចាយវាយ ហើយសំចៃក្នុងរបីកេន (អា.៣.១៣ ឆ្នាំក្រោយរាជាភិសេក) លុះឆ្នាំតទៅទៀត (អា.៥) បានតាំងបង្កើតឲ្យមានអ្នករាជការ ១ បែបផ្សេងទៀត (ធម្ម.មហាមាត្រ) អ្នករាជការពួកនេះមានមុខក្រសួងត្រូវពិនិត្យសេចក្ដីមានក្នុងលំអានធម៌គឺ:

១- ក្រសួងត្រួតត្រាការរាជការគ្រប់ក្រុម ។

២- ក្រសួងថែរក្សាទូវសេនាពាហនព្រាហ្មណ៍ អ្នកកំសត់ទុគ៌ត

មនុស្សចាស់ជរា) ។

៣- ក្រសួងនគរបាល មានមុខងារក្រៃលែង ឬនឹងបន្ថយទោស មនុស្សឯណាដែលជាប់ទោស ដោយចាញ់ឧបាយផ្សេង ៗ ឬដោយ អាយុជ្រុលហួស ឬក៏ដោយមានគ្រួសារក្នុងបន្ទុកច្រើន ។

៤- ក្រសួងសង្គ្រោះព្រះវង្ស (ក្រុមសង្គហ)

ក្នុងប្រការទី ១ នៅស្រុកកលិង្គ ( បេ ១ ) មហាក្សត្រិយ៍បញ្ញត្តិ ដល់ឧត្តមមន្ត្រី ដោយសេចក្តីដាច់ខាតយ៉ាងដូច្នេះ "យើងចូលចិត្តឲ្យ សេចក្តីបំណងរបស់យើង" បានសម្រេចជាដាច់ខាតដោយបទណាដែល ជាល្អ ឯបទដែលវិសេសជាងគេនោះ គឺសេចក្តីឧបន្នានដែលយើងបាន បញ្ញត្តិដល់អ្នកទាំងអស់ ។

" អ្នកទាំងអស់ដែលយើងតាំងជាទីពឹង នៃមនុស្សជាច្រើនរយពាន់ ត្រូវខំរក្សាចិត្តអ្នកល្អជា " មនុស្សទាំងអស់ ទុកដូចជាកូនរបស់យើង បើ យើងប្រាថ្នាឲ្យកូនទាំងឡាយរបស់យើងបានសេចក្តីសុខ សេចក្តីចម្រើន ក្នុងជាតិនេះ និងក្នុងជាតិមុខ មានប្រការយ៉ាងណា យើងក៏ត្រូវប្រាថ្នាឲ្យ មនុស្សទាំងអស់មានប្រការយ៉ាងនោះដែរ ក៏ប៉ុន្តែសេចក្តីទាំងនេះ កម្រនឹង សម្រេចបានគ្រប់ដំពូកណាស់ ព្រោះមនុស្សខ្លះនៅមានកាន់លទ្ធិតាមអំពើ ចិត្តខ្លះដែរ ត្រូវតែអ្នកណែនាំមនុស្សទាំងនោះ ឲ្យប្រព្រឹត្តនូវធម៌ត្រឹមត្រូវ ឡើង ។

"ម្យ៉ាងវិញទៀត បើមានមនុស្សណា ១ ដែលជាប់ទោសក្នុងគុក

និងត្រូវគេធ្វើទុក្ខធ្វើបាប គោងអ្នកទៅកាន់ទីនោះ ដើម្បីពិនិត្យកំចាត់បង់នូវទោស គុកដែលឥតរឿងហេតុត្រូវអ្នកមានចិត្តតម្រង់មនុស្សទីមួយ ៗ ឲ្យចូលក្នុងផ្លូវល្អផ្លូវសុចរិត ។

" មានគតិខ្លះ ដែលឃាត់មិនឲ្យចម្រើន គឺសេចក្តីច្រណែន សេចក្តីរវើរវាយ សេចក្តីរឹងត្អឹង សេចក្តីមិនមានកំណត់ សេចក្តីធ្វេសប្រហែស សេចក្តីខ្ជិលច្រអូស សេចក្តីប្រមាទ· អ្នកទាំងឡាយត្រូវសង្កាត់ឲ្យបានផុតពីអគតិទាំងនេះ "

" ក្នុងផ្លូវធម៌ដែលជាធំជាងគេនោះ គឺព្យាយាម និងខន្តី មនុស្សខ្ជិលច្រអូសរមែងមិនក្រោកមិនកម្រើក ត្រូវតែទៅមុខ ត្រូវតែដើរ ក្នុងការត្រួតត្រា ដែលអស់អ្នកជាប់កិច្ច និងត្រូវសម្រេចការនោះក៏មានប្រការដូចគ្នា ដោយហេតុនេះបានជាយើងបញ្ជាក់បែមទៀតអំពីបញ្ញត្តិរបស់យើងឲ្យច្បាស់ថា គោងញ៉ាំងសេចក្តីប្រយ័ត្នចំពោះលើបញ្ញត្តិរបស់យើង ដោយពោលថា "នេះហើយ នោះហើយ ជាព្រះរាជបញ្ញត្តិ" សេចក្តីសម្រេចតាមបញ្ញត្តិទាំងនោះ អាចនឹងមានប្រយោជន៍ជាច្រើន សេចក្តីដែលមិនសម្រេចតាមលក្ខណៈបញ្ញត្តិនោះ អាចនឹងនាំឲ្យខូចខាតប្រយោជន៍ជាច្រើន អ្នកឯណាដែលមិនធ្វើឲ្យបានសម្រេចតាមលក្ខណៈនោះ ឥតបានអនុគ្រោះពីព្រះពុទ្ធ ឬ ពីមហាក្សត្រិយ៍ឡើយ បានជាយើងខ្វល់ខ្វាយក្នុងការទាំងនេះពេក ពីព្រោះប្រាថ្នាប្រយោជន៍ ២ យ៉ាង :

១· គឺដើម្បីនឹងឲ្យអ្នកបានសេចក្តីសុខព្រោះអ្នកធ្វើតាមផ្លូវនេះផង ។

២. ដើម្បីឲ្យអ្នកប្រែបំណុលអំពីយើងផង ។

ក្នុងប្រកាស ១ ទៀត ដែលបញ្ញត្តដល់មន្ត្រីនោះ មានទពណ៌នាតែអំពីជាតិដែលមិនចុះចូល ( អន្តោគវិជិតា ) គឺជាពួកដែលនៅព្រំប្រទល់ដែនដែលល្ងង់ខ្លៅមិនស្តាប់បង្គាប់ ។ គំនិតចំពោះនឹងជនទាំងនេះ កើតអំពីសេចក្ដីករុណា របស់ព្រះអង្គ ( លេខ២ ) ។

នេះឯងដែលខ្ញុំប្រាថ្នាចំពោះដល់បណ្ដាកស្ត្រ ដែលនៅប្រទល់ដែន តោងបណ្ដាកស្ត្រទាំងឡាយជឿជាក់ថា មហាក្សត្រិយ៍ប្រាថ្នាមិនឲ្យកស្ត្រទាំងឡាយនោះ មានសេចក្ដីបារម្ភ ត្រូវឲ្យទុកចិត្តដល់មហាក្សត្រិយ៍ ត្រូវទទួលអំពីមហាក្សត្រិយ៍ តែសេចក្ដីសុខឥតទុក្ខឡើយ ហើយតោងឲ្យបណ្ដាកស្ត្រជឿជាក់សេចក្ដីនេះថា ព្រះករុណាស្រឡាញ់រាប់អានដល់ខ្លួន ហើយមួយទៀតដើម្បីឲ្យយើងទុកចិត្តក្ដី ឬ ពីព្រោះតែយើងក្ដី បានជាត្រូវតែគេប្រតិបត្តិធម៌ជាផ្លូវលោកិយនិងលោកុត្តរ " គឺដោយហេតុនេះហើយដែលយើងបញ្ញត្តដល់អ្នកទាំងឡាយ កាលណាបើដូច្នេះ បញ្ញត្តិដែលយើងមានមកដល់អ្នកទាំងប៉ុន្មាន ជាសេចក្ដីប្រាថ្នាយើងជាដាច់ខាតឥតប្រែប្រួលបានឡើយ យល់ឃើញដូច្នេះហើយត្រូវតែអ្នកធ្វើតាមមុខការរៀងខ្លួន ហើយយកចិត្តកស្ត្រឲ្យជឿថាយើងជាមហាក្សត្រិយ៍ដូចជាបិតាអ្នកទាំងឡាយ ហើយទ្រង់មានព្រះហឫទ័យ ស្រឡាញ់គេដូចជាស្រឡាញ់ព្រះអង្គឯង ត្រូវឲ្យគេទុកដាក់ខ្លួនដូចជាព្រះរាជបុត្រព្រះអង្គបង្កើត ដែលយើងបានបញ្ញត្តដល់អ្នកនឹងឲ្យស្គាល់ចិត្តយើង ។ នឹកថាក្នុងស្ថាន

នេះ អ្នកឯងជាអ្នកឧស្សាហ៍ សម្រេចតាមបញ្ញាប់ទាំងឡាយ ឥតខ្ចះខាតត្បិតអ្នកទាំងឡាយជាមនុស្សទំនុកទុកចិត្តនៃជនទាំងឡាយ នោះនឹងឲ្យផលដល់ជនទាំងនោះ បានសេចក្តីសុខនិងសេចក្តីចម្រើនក្នុងជាតិនេះ និងក្នុងជាតិមុខ ហើយបើធ្វើដូច្នេះទៅ អ្នកនឹងបានសម្បត្តិសួគ៌ និង បានរួចបំណុលអំពីយើង ។

មានសេចក្តីសំខាន់មួយទៀតដែលអសោកមានគំនិតយ៉ាងវិសេសដូចជាយើងនឹងនិយាយឥឡូវនេះ ហៅថាសាសនា គំនិតនោះអធិប្បាយជាសេចក្តីសង្ខេបថាដូច្នេះ មហាក្សត្រិយ៍ទ្រង់តាំងព្រះហឫទ័យជាកណ្តាលទូទៅ សេចក្តីស្រាកស្រួលរបស់ពស្ត្រប្រាស្រ័យគ្នាទៅវិញទៅមក មហាក្សត្រិយ៍ទ្រង់ព្រះហឫទ័យឧបេក្ខាចំពោះទូទៅ ដល់សាសនាទាំងឡាយ ដោយសាសនាទាំងអស់នោះមានប្រាថ្នាតែ ១ ដង់គ្នាដែលវិសេស គឺសេចក្តីសង្រួម និងសេចក្តីបរិសុទ្ធនៃខ្លួន (សយាមេការសុធិ គា ៣៧) គោលដែលជាធំគឺកិរិយាបង្អោនខ្លួនទៅកាន់សាសនាទំមួយ ។ (អត្ថនាបចូបគមនេមោខ្យមតេ ហ្វៃ ៦) ដែលមហាក្សត្រិយ៍មិនសព្វព្រះហឫទ័យ គឺមិនមែនចំពោះតែទៅបែបយ៉ាងសាសនាណាៗទេ គឺមិនសព្វព្រះហឫទ័យនឹងសេចក្តីព្រងើយកន្តើយមិនកាន់សាសនា ស្ថានទេទ្រង់ក៏បានសម្តែងនូវព្រះរាជតម្រិះជាសេចក្តីដ៏វិសេសក្នុងប្រកាសទី ១២ (គា ១២) ។

ព្រះបាទសម្តេចព្រះពៅបិយទសិ គោរព ១ ដល់ពួកអ្នកបួសនោះជាពួកតាបសក្តី ជាពួកគ្រហស្ថក្តី ព្រះអង្គគោរពដោយឲ្យទាននិងដោយ

កិច្ចគោរពផ្សេង ៗ ប៉ុន្តែដែលជាប្រយោជន៍ដល់ព្រះអង្គជាងឲ្យទាន និងជាងគោរពនោះ គឺជាសេចក្តីចម្រើនខ្លឹមសារនៃពួកទាំងនោះ (សារវឌ្ឍី) សេចក្តីចម្រើននោះមានច្រើនយ៉ាង ប៉ុន្តែមានឫសតែ ១ គឺសេចក្តីសង្រួមវាចាដែលមានស្ពានថាកុំនិយាយអួតអាង នូវសាសនារបស់ខ្លួន ហើយបន្ទាប់សាសនាគេឯទៀត កុំឲ្យបន្ទាប់បន្ថោកសាសនាគេឯទៀត នេះដោយឥតឱកាសគួរតែសរសើរសាសនាទាំងឡាយនេះ គ្រប់ឱកាសវិញ បើធ្វើយ៉ាងដូច្នេះគេហៅថាធ្វើឲ្យចម្រើននៃសាសនារបស់ខ្លួន ហើយគេជួយសង្គ្រោះដល់សាសនាឯទៀត បើមិនធ្វើយ៉ាងនេះទេ គេហៅថាធ្វើខុសក្នុងសាសនាខ្លួន ដោយបំផ្លាញដល់សាសនាឯទៀត ព្រោះថាបើអ្នកណាអួតអាងនូវសាសនារបស់ខ្លួន ហើយបន្ទាប់សាសនាឯទៀត គឺធ្វើដោយស្រឡាញ់សាសនាខ្លួនថ្កុំថ្កើង ប៉ុន្តែបើធ្វើយ៉ាងដូច្នេះ អ្នកនោះឯងឈ្មោះថាធ្វើឲ្យខូចខាតសាសនាខ្លួនវិញទេ មានសេចក្តីល្អតែ ១ គឺសេចក្តីព្រមព្រៀងគ្នាដែលនាំចិត្តឲ្យស្តាប់ធម៌ ហើយចូលចិត្តស្តាប់ធម៌អាថ៌របស់សាសនា ១ ទៀត នេះហើយជាសេចក្តីប្រាថ្នារបស់មហាក្សត្រិយ៍ដែលឲ្យពួកអ្នកបួសទាំងអស់ចេះដឹងបរិបូណ៌ដោយប្រាជ្ញា ។

ទាំងអស់គ្នា ទោះមានសន្តានចិត្តដូចម្តេច ៗ ក្តី ត្រូវតែនិយាយថា ឯទាននិងកិច្ចគោរពនោះ មានប្រយោជន៍ដល់មហាក្សត្រិយ៍ តិចជាងសេចក្តីចម្រើនក្នុងផ្លូវសាសនា និងសេចក្តីកោតខ្លាចដល់ពួកទាំងឡាយ

ព្រោះតែហេតុនេះហើយ បានជាមានបង្កើតពួកត្រួតត្រាធម៌ (ធម៌មហាមាត្រ)(១) ពួកត្រួតត្រានៃស្រី ពួកវច្ចភូមិក និងក្រុមរាជការផ្សេងៗ ទៀត ផលនៃសេចក្ដីត្រួតត្រាទាំងនោះ គឺជាសេចក្ដីចម្រើននៃសាសនារបស់យើងនិងពន្លឺនៃធម៌ ដោយមានលក្ខណបញ្ញត្តិនេះហើយ ពិតមែនជាព្រះបាទអសោកលោកកាន់ពុទ្ធសាសនា ដោយមាំមួន តែគង់ទ្រង់បានធ្វើអំណោយគុហារ ៣ ដល់ពួកអាជីវកទៀតដែរ ។

## អំពីពុទ្ធសាសនា

យើងបានដឹងដោយចារឹករបស់ស្ដេចអសោក ថានៅឆ្នាំទី ៩ ក្នុងរាជព្រះអង្គជាក្រោយចម្បាំងស្រុកកលិង្គ នោះព្រះអង្គបានចូលកាន់ពុទ្ធសាសនាហើយថ្វាយខ្លួនទៅជាឧបាសក ប៉ុន្តែមិនបានជាខ្នះខ្នែងប៉ុន្មានទេ ហើយក្នុងឆ្នាំទី ១១ ព្រះអង្គបានទទួលឧបសម្បទជាភិក្ខុ (ប ១ អា. អា ៨) រីឯប្រកាសទាំងឡួងរបស់ព្រះអង្គមិនមែនជាខ្ទាន់ឲ្យជឿសាសនាឡើយ គឺគ្រាន់តែប្រកាសផ្លូវប្រតិបត្តិប៉ុណ្ណោះទេ លើកតែប្រកាសមួយនោះ ដែលមានកិរិយាប្រាស់ទាក់ពុទ្ធសាសនាគឺប្រកាសនៅស្រុកភព្រ (ដ) ។

ប្រកាសនេះបានបញ្ញត្តដល់សង្ឃមគធ ដែលថាសង្ឃមគធនោះ មិនមែនចំពោះទៅលើតែសង្ឃ ដែលនៅក្នុងដែនមគធនោះទេ គឺជាសង្ឃ

---

១- សេចក្ដីអធិប្បាយ អា ៥ ក្នុងឆ្នាំ ១៣ ក្រោយរាជាភិសេក ខ្ញុំបានបង្កើតក្រុមត្រួតត្រាធម៌ ក្រុមរាជការនេះមានបន្ទុកត្រួតមើលគ្រប់ពួកនៃសាសនាទាំងអស់ ដើម្បីបង្កើតផ្លូវធម៌សន្ដោស ដើម្បីជាប្រយោជន៍និងចម្រើនដល់អ្នកដែលកាន់រក្សាធម៌ ។

ក្នុងពុទ្ធសាសនាទាំងអស់ ជាទូទៅសាធារណៈដែលហៅថាសង្ឃមគធនោះ ពីព្រោះហៅតាមឈ្មោះស្រុកដើម ក្នុងប្រកាសនោះ មិនឃើញមានចុះថ្ងៃខែឆ្នាំឡើយ ប៉ុន្តែឃើញដោយស្មានថានៅឆ្នាំទី ១៨ ក្រោយរាជាភិសេក ប្រកាសនោះ មាននិយាយពីរចំណែក ៖

១- ប្រកាសនូវសេចក្តីសទ្ធារបស់ស្តេច

២- សេចក្តីអធិប្បាយធម៌ ( ធម្ម-បរិយាយ ) ដែលមហាក្សត្រិយ៍តម្រូវឲ្យអ្នកបួសរៀនសូត្រ

ព្រះបាទសម្តេច ថិយទសី (១) ថ្វាយបង្គំដល់ព្រះសង្ឃមគធ ហើយឲ្យពរសព្ទសាធុការ ឲ្យបានសេចក្តីសុខសេចក្តីចម្រើន ។

បពិត្រលោកម្ចាស់ដ៏ចម្រើន (ភន្តេ) លោកម្ចាស់ជ្រាបស្រាប់ហើយ មានប្រការដូចម្តេចខ្លះ ដែលខ្ញុំព្រះករុណាមានសេចក្តីគោរពនិងកោតខ្លាចដល់ព្រះពុទ្ធ ព្រះធម៌ និង ព្រះសង្ឃ ពាក្យណាដែលជាពុទ្ធភាសិត ពាក្យនោះជាពិត ឯចំណែកខ្ញុំព្រះករុណាអាចព្យាករថា " ធម៌ដែលល្អ នឹងស្ថិតស្ថេរជាយូរអង្វែង " ។

ឯបរិយាយដល់អ្នកបួស ដែលព្រះសម្ពុទ្ធបានសម្តែងនោះមាន ៧ ប្រការគឺ (២) ៖

---

១- ត្រង់នេះមហាក្សត្រិយ៍ភ្លេចគោរម្យងារសព្វមួយពិងថា ទេវានំបិយោ

២- វៀរលែងតែ (១ និង ៦) ចេញនោះ ធម្មបរិយាយទាំងនេះត្រូវគ្នាទាំងអស់

៣- សង្គីតិសុត្ត ជើ ។

១ វិនយសមុកសេ សេចក្តីខ្ពង់ខ្ពស់នៃវិន័យ

២- អលិយវំសានិ អំណាចនៃព្រះអរិយ

៣- អនាគតភយានិ សេចក្តីភ័យដែលនឹងមានមកខាងមុខ ៗ

៤ មុនិគាថា គាថានៃព្រះមុនី

៥- មោនេយសូត្តេ សូត្រនៃធម៌របស់ព្រះមុនី

៦- ឧបតិស្ស បសិនេ អំពីបញ្ហាឧបតិស្ស

៧- លាឃុលោវាទេមុសាវាទំអធិគិច្ច ប្រៀនប្រដៅដល់រាហុលអំពីមុសាវាទ ៗ

ខ្ញុំសូមឲ្យភិក្ខុ និង ភិក្ខុនីស្តាប់ទូន្មានទាំងនេះ ហើយពិចារណាជាញឹកញយ ព្រមទាំង ឧបាសក ឧបាសិកា ទាំងឡាយផង ដោយហេតុនេះហើយ លោកម្ចាស់ បានជាខ្ញុំព្រះករុណាចាត់ចែងឲ្យធ្វើសិលាចារឹកនេះ ដើម្បីឲ្យគេដឹងនូវសេចក្តីបំណងរបស់ខ្ញុំ ព្រោះអាស្រ័យសេចក្តីនេះ ទើបគម្ពីរត្រៃបិដកទាំងឡាយ គេបានសូត្ររៀនក្នុងវត្តអារាមទាំងឡាយក្នុងរវាង ៣០០ ឆ្នាំ មុនគ្រិស្តសករាជ ប៉ុន្តែប្រហែលជាសូត្រជា

---

៤- អង្គុត្តរ ខ្សែ ៣ ទំព័រ ១០៥-១០៨

៥- សុត្តនិបាត ទំព័រ ២០៦-២២០

៦- អង្គុត្តរ ខ្សែ ១ ទំព័រ ៤៣២ គឺតិវគ្គ លេខ ៦៧

៧- មជ្ឈិមនិកាយ ខ្សែ ១ ទំព័រ ៤១៤-៤២០

ភាសាប្លែកបន្តិច ពីភាសាបាលី (១) ។

បើដូច្នេះឃើញថា កាលក្នុងរាជ្យអសោកនោះ ព្រះពុទ្ធសាសនា រុងរឿងចំរើនល្អក្នុងដំបន់ខាងជើងស្រុកឥណ្ឌា ហើយប្រហែលជាទូទៅ គ្រប់កន្លែង ដែលមានព្រះរាជអាជ្ញាផ្សាយដល់មានវត្តអារាមធំ ៗ ដូចជា អសោការាម និង កុក្កុដារាមនៅក្រុងបាដលិបុត្រ មានសាងស្តូបជាច្រើន ដាក់ទុកនៅគោរពព្រះសារីរិកធាតុនៃព្រះសក្យមុនី ឬ បូជាគោរពដល់ព្រះពុទ្ធ មុន ៗ (កនកមុនី) គេបានសូត្ររៀន ឬ ធ្វើធម្មសាកច្ឆាអំពីគម្ពីរព្រះ ត្រៃបិដក ។

X

X X

## បរិច្ឆេទទី ៥

## អំពីស្តេចអសោកទិវង្គតទៅដល់រាជ្យកនិស្ក

## [ ឆ្នាំ ២២៥ មកដល់ ៧៨ មុខគ្រិស្តសករាជ ]

តពីអសោកស្តេចទិវង្គតទៅ ដល់កនិស្ក (ប.២២៥ មុនគ្រិស្តសករាជ ប.៧៨ គ.ស) ។

វង្សក្សត្រិយ៍មោរ្យប្រហែលជាផុតត្រឹមឆ្នាំ ១៧៨ មុនគ្រិស្តសករាជ ក្នុងក្រោយព្រះបាទអសោកក្រោយបន្តិច គឺព្រហទ្រថ ដែលបុស្យមិត្រ

---

១.- ក្នុងបារឹកនៅស្តូបនៅក្នុងស្រុក ភរហុត ក៏មាននិយាយដែរ (២០០ ឆ្នាំមុនគ្រិស្តសករាជ) ឯចំនួនឈ្មោះទៅដាញ់ពួកក៏មានឆ្លាក់ជារឿងក៏វ អណ្តូកូតា ជាតក (លេខ. . . ហ្វូស្សូល វ៉ូ ១ ទំព័រ ២៨៩ មានចំណាងជើងថា យ៉ព្រាហ្មណោអវ័យសិ ជាតក ឯចំណែកខាងភាសាបាលីថា យំព្រាហ្មណោអវទេសិ ។

ដែលជាអ្នកតាំងវង្ស សុង្គ ដណ្ដើមយកពជសម្បត្តិបានទៅ ពជត្រកូលក្រោយនេះ តមកបានក្សត្រិយ៍ ១០ ព្រះអង្គសោយពជ្យដរាបដល់ឆ្នាំ ៧០ មុនគ្រិស្តសករាជ ។

បុស្យមិត្រ (ប.១៧៨.១៤២) ដើម្បីធ្វើឲ្យឃើញថាជាអ្នកស្អប់ពុទ្ធសាសនាជាបំផុតណាស់ បានរើបំផ្លាញនូវកុក្កុដារាមដែលព្រះបាទអសោកបានសាងនៅក្រុងបាដលិបុត្រ ហើយបានសម្លាប់ភិក្ខុជាច្រើនពាន់ប្រមាណ ក្សត្រិយ៍នេះបានតយុទ្ធនឹងពួកយវន (ក្រិក) ដែលមកពីបាកទ្រិយានទៅលុកលុយដំបន់ទិសពាយព្យនៃស្រុកឥណ្ឌាទៀត ក្នុងវង្សនេះមានក្សត្រិយ៍ ១ ព្រះអង្គល្បីឈ្មោះខាងជួយពុទ្ធសាសនា គឺមេនន្ទ្រដែលគេសន្មតិនាមថា មិលិន្ទ ជាអ្នកសួរនូវមិលិន្ទបញ្ហា ហើយឯអ្នកឆ្លើយ គឺព្រះនាគសេនថេរ ក្សត្រិយ៍នេះគ្រងរាជ្យក្នុងឆ្នាំ ១៥០ មុនគ្រិស្តសករាជក្នុងក្រុងសាគលក្នុងដែនបញ្ជាប់ (១) បុស្យមិត្របានធ្វើសង្គ្រាម បានឈ្នះក្សត្រិយ៍ ១ អង្គនិង នគរខាងត្បូង ដែលមានបុទ្ធិ នាមជាសោតកណីជាក្សត្រិយ៍នៃពួកអន្ធ្រ ប្រហែលក្នុងឆ្នាំ ៧៥ មុនគ្រិស្តសករាជ ដែនបញ្ជាប់នោះ ពួកសក្កលុកលុយបានក្សត្រិយ៍របស់ពួកនេះជាដំបូង ដែលគ្រងរាជ្យក្នុងប្រទេសឥណ្ឌា (គឺ មូអេស ឬ មោគ) អាសេសទី ១ និង អាស៊ីលីសែស ប្រហែលជាអាសេសទី ១ ដែលជាអ្នកតាំងសករាជ វិក្រម (៥៨ ឆ្នាំមុនគ្រិស្តសករាជ) ដែលជាទីសម្គាល់នូវកាលនៃរាជាភិសេកស្ដេចនេះ សាវា

---

១-សាកល បាលីថា សាគល នោះគឺ ស្យាល្កោត នៅក្នុងដំបន់បញ្ជាប់ជាកណ្ដាលជិតនិតិងរី ។

នៃស្ដេចសក្កនេះ ផុតត្រឹមគ.ស.សតវត្សទី ២ (១៩ គ.ស) ហើយមានសាខាមែកនៃស្ដេចបហ្លាវ (គោណ្ដាផរេស ប ១៩-៤៩ គ.ស បរោ ររប ៤៩-៦៤ គ.ស) តវង្សត្រកូលសាខានេះ ហើយតពីវង្សក្រោយនេះមក មានវង្សកុសាណត្រកូលកជ្ជតទៅទៀត(១) រហូតកាលដែលផុតពូជស្ដេចមោរ្យ ទៅដល់ក្នុងកង្សព្ធកកុសាណនោះ ពុទ្ធសាសនានេះ តែងចម្រើនថ្កុំថ្កើងឡើងជាលំដាប់ ថ្វីបើបុស្យមិត្រប្រទូស្តនឹងព្រះពុទ្ធសាសនាដោយពិត ឬមិនពិត សេចក្ដីរុងរឿងនៃពុទ្ធសាសនានោះ មានបន្ទាល់ដោយប្រាសាទច្រើន ដែលគេបានសាងនៅក្នុងកាលនោះ ក៏សាងក្នុងជាន់នោះ គឺស្តូបនៅភហ៊ុត ១ (ប.១៥០ មុនគ្រិស្តសករាជ) ប្រាសាទនៅពោធគយា (រ.១០០ មុនគ្រិស្តសករាជ) ស្តូបតាំងឡាយ នៅសន្ទិទិង គេហៅជាបប់ម នៅអជន្តា (រ.៨០ ឆ្នាំមុនគ្រិស្តសករាជ) ហើយខាងក្រោយនេះ និង បដិមាករគ្រព្យពុទ្ធគ ដែលកើតមាននៅស្រុកគន្ធារ ។

ឯស្តូបនៅភហ៊ុត(២)នោះ នៅជិតភាគកណ្ដាលផ្លូវ ពីប្រាដលិបុត្រទៅវិទិសា គឺជាស្តូបមួយយ៉ាងធំ ទ្រង់មូលធ្វើពីឥដ្ឋមានរនៀងថ្មជុំវិញមានសណ្ឋានដូចគ្នា ហើយមានទ្វារ ៤ ឥឡូវនេះ ស្តូបនោះបាក់បែកស្ទើរ

---

១- សីលវ៉ែងឡេវី សេចក្ដីកត់សម្គាល់អំពីឥណ្ឌាស៊ីតវៀរ្យ ៩ ឡេប៊ុង (ដ ១៨៩៦ វៀរ្យ ១ ទំព័រ ៤៤៤ វៀរ្យ ២) សៀវភៅសាវិតារ ១៨៩៧ វៀរ្យ ១ ទំព័រ ១ ។

២- រឿងព្រះអ.ចុន្និង្ហម. គឺស្តូបនៅភហ៊ុតឡុងដ្រ ១៨៧៩ (រូបថត) ស.មុលជេង បែរអនគឹពុទ្ធិស្ទជាតក អ្នកប្រែឈ្មោះវិងសែលដ្រស១៨៩៣ ទំព័រ ៣០១ ណុតអនពុទ្ធិស្ត(អារ)អ្នកប្រែឈ្មោះវិយ៉េនេរ ដានស៍ ១៨៩៧ វ្យែ ១ ទំព័រ ១៨៣ វិសដាវិឌ ដ្រស៍ ១៨៩៦ ទំព័រ ១២៣ អាហ្វូសេ គំនូររឿងក៏វ ជាគកខោនដញ្ហាំង ភហ៊ុត ប៉ារីស ១៩០៨ កាសែតនៅបណ្ណាគារគីមេ ។

គ្មានសល់អ្វីបន្តិចសោះ ខឿនដែលសល់នៅនោះគេនាំមកតម្កល់ទុកក្នុង មន្ទីរតាំងរបស់ ( មូយសេ ) នៅក្រុងកាល់គុត្តា ខឿននេះ មានសសរ (ស្តម្ភ) ភ្ជាប់មកពីជ្រុង ៣ (ស្តូបិ) វិចិត្រដោយបែបផ្សេង ៗ ខឿននោះ មានដំបូលថ្មពីលើមេទ្វារទាំងឡាយ ទ្រនូរខ្វាងទ្វារទ្រង់ដងធ្នូ (តោរណ) អស់ទាំងទ្វារ សសរដើងទៀន និងមេដើងទៀននោះ មានឆ្លាក់ជារូប ឬ ជារឿងរ៉ាវហើយដែលមានជាច្រើន ហើយមានចារឹកចំណងជើងពន្យល់ ឲ្យដឹង ហេតុនេះបានជាគេឃើញរូបយក្ស យក្សិនី និង ទេវតា នាគធំៗ ជាច្រើននៅសសរ ១ នៅលើសសរ ១ ទៀត នៅទ្វារខាងជើងមាន ឆ្លាក់រូបកុបិយកេយក្ខា (កុវេរយក្ស ជាលោកបាលនៅទិសខាងជើង) ហើយនៅទ្វារខាងត្បូងមានរូបវិរុទកោ (គឺ វិរូឡ្ហកយក្ស ជាមេរក្សាទិស ខាងត្បូង) នៅកន្លែងផ្សេងទៀតគេឃើញមានរូបអប្សរ នាគរាជ ឯរាប តោ(ឯលាបត្រ) ។ល។

ក្នុងរឿងរ៉ាវដែលឆ្លាក់ទាំងនោះ ជួនកាលយកជាតិជាបំផុតរបស់ ព្រះសម្ពុទ្ធមកនិយាយ ជួនកាលយកជាតិមុនៗ មកនិយាយ រឿងរបស់ ព្រះអង្គកាលគង់ព្រះជន្មនៅក្នុងជាតិបំផុតនោះ មាន ៦ ។

១- គព្ភាវក្កន្តិ (ប ២៨២) ព្រះដ៏មានបុណ្យចុះមកកាន់យក បដិសន្ធិក្នុងផ្ទៃព្រះនាងមាយាដោយសណ្ឋានជារូបដំរី ។

២- ជេតវន អនាថបេទិ កោទេតិ កោដិសំថតេន កេតាអនាថ បិណ្ឌិកថ្វាយជេតវនដែលបានទិញជាប្រាក់ថ្លៃ ១ កោដិប្រាក់ ។

៣- ឥន្ទសាលគុហា អំពីព្រះឥន្ទចូលគាល់ព្រះសម្មាសម្ពុទ្ធក្នុងឥន្ទ្រ សែលគុហា ។

៤- អជាតសត្តុកតាតានូតេ (ប៉ូ ១៦-៣) អជាតសត្រូវចូលគាល់ព្រះសម្ពុទ្ធ ។

៥- បសេនទិកោសលោ (ប៉ូ ១៣-១) ព្រះបាទព្រះសេនជិត ព្រះចៅកោសលចូលគាល់ព្រះសម្ពុទ្ធ ។

៦- (គ្មានចារឹកចំណងជើង) ព្រះឥន្ទ្រចុះពីស្ថានត្រៃត្រឹង្ស (ប៉ូ.១៧.២) ឃើញមានជណ្ដើរ ៣; នៅកាំទី ១ និងកាំទីបន្ទស់នៃជណ្ដើរកណ្ដាលនេះ មានស្នាមព្រះបាទព្រះពុទ្ធ ១ ឯរូបឥន្ទ្រនិងព្រហ្មមិនឃើញមានធ្លាក់តំណាងឡើយ ។

រឿងជាតកទាំងឡាយ ដែលបានធ្លាក់ជារឿងជាប់នៅជញ្ជាំងបាហ៊ុននោះមានចំនួន ៥០ តែមាន ២៨ រឿងនោះគេស្គាល់ជាក់ខ្លះ មានរឿងឥតមានចារឹកចំណងជើងខ្លះ ដែលមានចំណងជើងនោះខ្លះត្រើយប្រកប ឬប្រហែលនឹងរឿងក៏ក្នុងគម្ពីរបាលី ខ្លះទៀតមានចារឹកប្លែកពីបាលីភាសា ដែលគេប្រើក្នុងចារឹកនោះ ប្លែកពីបាលីបន្តិចដូចមានសេចក្ដីធៀបខាងក្រោយនេះ ៖

បាហ៊ុន ជាតកបាលី

មឃទេវិយ-ជាតកំ លេខ ៩ មខាទេវជាតកំ តាមមគ្គាប់ស្ដេច ម.នាយខ្ទាន់ព្រះកេសបានថ្វាយដំណឹង អំពីព្រះកេសាស្កូវជាដំបូង ។

យំព្រាហ្មណោអរយេសិជាតក លេខ ៦២ អណ្ឌភូតជាតក

(ព្រាហ្មណ៍ម្នាក់ដេញពិណជូនក្អែក ឯប្រពន្ធខ្លួនកំពុងតែកាំជាមួយ នឹងសហាយ) គាថាទី ១ ថា យំព្រាហ្មណោអវាទេសិ ។

នាគជាតកំ លេខ ២៦៧ កុក្កុដជាតក ដំរីជំទង់ ១ ត្រូវដោយក្តាមគៀប ចារឹកនៅបាហុតយកមកពីដំរី ឯចារឹកជាតកជាបាលីយកមកពីក្តាម ។

[ ភាគិដ ]

ពិឡុលជាតក កុក្កុដជាតក លេខ ៣៨៣ កុក្កុដជាតក ( មាន់ឈ្មោល ១ បានឮឧបាយបញ្ឆោតរបស់ឆ្មាញីហើយមិនព្រមចុះពីលើឈើទ្រនំរបស់ខ្លួន ) ។

មិគជាតក លេខ ៤៨២ រុរុជាតក (សត្វប្រើសរុរុដែលបានសង្គ្រោះដល់មនុស្ស មនុស្សនេះត្រឡប់ប្រទូស្តវិញ តែមហាក្សត្រិយ៍បានជួយដោះសត្វនោះដោយទ្រង់មេត្តា ។

វិតុរបុនកិយ ជាតក លេខ ៥៤៥ វិធុរបណ្ឌិត ជាតក ( ស្តេចយក្សឈ្មោះបុណ្ណកប្រាថ្នានឹងសម្លាប់វិធុរបណ្ឌិត តែសម្លាប់មិនបាន ) ។

យវមឈកិយំជាតកំ លេខ ៥៤៦ មហាឧម្មគ្គជាតក (នាងអមរាជាស្រីប្រកបដោយបញ្ញាពិតកល្យាណី ជាភរិយារបស់មហោសថនៅភូមិយវមជ្ឈក ដាក់អ្នកលេង ៤ នាក់ ដែលមកចែចង់នាងនេះក្នុងកញ្ជើ ។

ក្រៅពីរឿងរ៉ាវក្នុងជាតិបំផុត នៃព្រះពុទ្ធនិងជាតកទាំងឡាយនោះ ឃើញមានរឿងរ៉ាវក្នុងសាសនាផ្សេងៗ ទៀត ដូចជាពួកទេវបុត្រ ទេវតានៅក្នុងស្ថានត្រៃត្រឹង្ស គោរពដល់ព្រះសាសនាព្រះសក្យមុនី (លេខ ៦៤) សុធម្មទេវសភាបុឌមហា (អំពីមង្គលក្នុងសក់នៅសុធម្មទេវសភា) គឺសាលា

ជាទីប្រជុំនៃទេវតា (១) សេចក្ដីគោរពដល់ស្តូប ដល់ធម្មចក្រដល់ពោធិព្រឹក្សនៃព្រះពុទ្ធទាំង ៧ ព្រះអង្គដែលកន្លងទៅ ។

១- វិបស្សិ (វិបស្សី) ឈើ បាដលិ (ដើមប្រទៀង)

២- សិខិ (សិខី) បុណ្ឌរីក (ឈូកស)

៣- វេស្សភុ (វិស្សភុ) សាល (ដើមរាំង ឬ ឈើដែលមានខ្លឹម)

៤- កកុសន្ធ (ក្រកុច្ឆន្ទ) សិរីស (ស្រេស)

៥- កោនាគមន (កនកមុនី) ឧទុម្ពរ (ដើមល្វា)

៦- កស្សប (កាស្សប) ន្យគ្រោធ (ជ្រៃ)

៧- សក្កមុនី (សាក្យមុនី) បិប្បល (ដើមពោធិ) នៅប្រាសាទបាហ៊ុត ដើមសិខិនោះបាត់បង់ទៅតែឃើញនៅសល់តែដើមទាំង ៦ ។

១-(២៨) ភគវតោ វិបសិនោ ពោធិ

៣-(៣) " វេសភុនោ ពោធិ សាលោ

៤-(៧៨) " កកុសធស្ស ពោធិ

៥-(១១) " កោនាគមនស ពោធិ

៦-(៤៩) ភគវតោ កាសបស ពោធិ

៧-(២៨) សាក្យមុនិនោ ពោធិ

ហើយមានទៀតជាច្រើន ដែលកត់សម្គាល់ ចំណែកស្តូបដែលបណ្ដាជនបានវេរផ្ដាច់សម្រេចដល់សាសនាដូចជាសសរ ១ (ចំពោះស្តម្ភ)

---

១- សេចក្ដីអធិប្បាយរបស់ហ៊ុបែរ អំពីព្រះពុទ្ធសាសនា ប៊ុល្លេតាំងលេខ ១៤,១៩ ។

ធ្មិម ១ (សូចិ) ទាយកម្នាក់ អ្នកធ្វើអំណោយបានថ្វាយកងនៃពោធិ ១ (ពោធិបក ៥១) ទាយកទាំងនេះ ជួនកាលជា (គហបតិ) ជួនកាលជាអ្នកបួសដែលមានបណ្ដាស័ក្តិថា អយ (អាយ៉ិ) និងបានទូវពាក្យគួរគោរពថា "ភទន្ត" ក្នុងពួកទាំងនេះ គេឃើញមានពួកអ្នកសម្តែង ឬ អ្នកពោល (ភានក) ជាច្រើន ៧៧,៩១ ។ល។ មានម្នាក់ស្ទាត់គោលពួកសោត្រាន្តិក (សុត្តន្តិក) (៨៥) មានម្នាក់ទៀតជាអ្នកប្រាជ្ញក្នុងនិកាយទាំង ៥ (បញ្ចនេកាយិក ៤២) ឯពួកភិក្ខុនីដែលបានធ្វើអំណោយនោះ មានជាច្រើន មានទៀន១នោះ គឺជាងប៉ាន់រូបម្នាក់បានធ្វើ (រូបការក ៤២) ទាយកម្នាក់ទៀតឧទ្ទិសថា កុសលដែលខ្លួនបានធ្វើនោះ ឲ្យបានដល់ឪពុកនិងម្តាយ (មាតាបិតុនអដ្ឋាយ ប ១៤០ លេខ ២៩) ទាយកទាំងប៉ុន្មាននោះ ឃើញមានច្រើនតែអ្នកស្រុកបាដលិបុត្រ វេទិសា និងនាសិក ។

នៅពោធិគយា ខឿនព័ទ្ធជុំវិញនៃប្រាសាទធំ និង សសរនៃចង្ក្រមជិតប្រាសាទនោះ គេចាត់ទុកថា របស់ទាំងនេះ កើតនៅក្នុងឆ្នាំដំបូងនៃគ្រិស្តសករាជ ខឿននោះកាលដើម ព័ទ្ធជុំវិញនៃពោធិទ្រុមនោះបែបដូចវិហារតូច ប្រាសាទសព្វថ្ងៃនេះបានសាងក្នុងរវាងឆ្នាំ ៥០០ ហើយបានជួសជុលជាច្រើនលើកច្រើនដងតមកហើយ ។

តាំងពីឆ្នាំ ៥០ តមកនោះ បានសង់ខឿននៃស្តូបធំនៅស្រុកសញ្ចី (ភោបល) មួយអន្លើដោយទ្វារប្រាសាទនេះទាំង ៤ (តោរណ) ទៅទ្វារទាំងនេះមានឆ្លាក់ដូចជានៅប្រាសាទ បារហុតដែរ ក) អំពីរឿងរ៉ាវរបស់ព្រះ

សម្ពុទ្ធកាលជាមានទៅ, ខ) អំពីជាតកផ្សេង ៗ ហើយនិងរឿងកំរឯទៀត, គ) អំពីរឿងដែលកើតឡើងក្រោយពុទ្ធសម័យ; ក- ចេញពីប្រាសាទ សម្គាល់តំណាងដោយប្រាសាទពោធិឃរមួយកន្ទើនិងបល្ល័ង្កទទេ នៅខាងក្នុងនិងមែកពោធិទ្រុមចេញតាមបង្អួចកិរិយាចុះចូលនៃកស្សប (បាដិ-ហារទឹកលិច) ពិម្ពិសារចូលគាល់ ។

ខ- ឆទ្ទន្តជាតក (លេខ ៥១៤) រឿងឯកស្រឹង្គ (គឺអលម្ពុសាជាតក លេខ ៥២៣ ឬ នឡិនិកាជាតក លេខ ៥២៦) វេស្សន្តរជាតក (លេខ ៥៤៧) មហាកបិជាតក លេខ ៤០៧ សាមជាតក (លេខ ៥៤០) ។

គ- អំពីស្តេចអសោក និង នាងតិស្សរក្ខិតា ជាមហេសីយាងទៅកាន់ដើមពោធិទ្រុម ដើម្បីប្រោះដើមនេះ ឲ្យមានកម្លាំងរស់ដូចដើម នៅវេលាក្រោយដែលត្រូវស្នេហ៍អគ្គមហេសីហើយ គេឃើញមានរឿងកំរផ្សេង ៗ ក្នុងពុទ្ធសាសនាទៀត ដូចជាទេវលោកទាំង ៦ ព្រះពុទ្ធទាំង ៧ ព្រះអង្គដែលកន្លងទៅនោះ គេបានឆ្លាក់ជាបល្ល័ង្កតំណាងក្រោមដើមឈើ ដែលបានត្រាស់គ្រប់ ៗ ព្រះអង្គ ។ល។ ស្តូបទាំងឡាយនៅសញ្ចីនោះមានចារឹកនូវសេចក្តីប្រាថ្នាជាច្រើនចំនួនប្រហែល ៣០០ បណ្តាយកទាំងប៉ុន្មាននោះ គេឃើញមានភិក្ខុ ៥៤ ភិក្ខុនី ៣៧ ឧបាសក ៩១ និងឧបាសិកា ៤៥, ចំនួនភិក្ខុ និង ភិក្ខុនី នោះមានជាច្រើន ដោយអ្នកបួសទាំងនេះ មិនមែនជាអ្នកបួសមានវត្ថុទ្រព្យផ្ទាល់ខ្លួនជាច្រើន ត្រូវតែប្រមាណថាអ្នកបួសទាំងនោះ អង្គាសប្រាក់យកមកសាងស្តូបទាំងនោះ

ក្នុងភិក្ខុទាំងនោះមាន ១ អង្គបាននាមថា បចនេកយិកោ គឺបញ្ចានៃកាយិកោ សព្ទនេះដែលមាននៅក្នុងបាវហុតហើយ ច្បាស់ជាអធិប្បាយថា "ដឹងនូវនិកាយទាំង ៥" ហើយឃើញថា ចំណែកនៃសុត្តន្តបិដកជា ៥ និកាយនោះ មានកើតក្នុងជាន់នោះ រួចហើយកាលគ្រានោះ មានភិក្ខុនីដែលហៅថា សុត្តន្តិកិនី គឺសៅត្រាន្តិកិនី ហើយជាអ្នកស្មគ្រក្នុងពួកសៅត្រាន្តិក មានអំណោយខ្លះបានអំពីអ្នកស្រុកទាំងឡាយ គឺអំណោយ ១ ពួក ជាងក្លុកនៅស្រុកទិសាបានធ្វើ ( វេទិសកា ទន្តកា ) អំណោយ ១ ទៀត មានចុះសេចក្ដីប្រែ តោធគោជ្ឈិយាធម៌វេនទាទាំ គឺពៅទ្ធ-គោស្ដ្រាធម៌វេទិទាំ „ ទាននៃក្រុមអភិបាលពុទ្ធសាសនានៃធម៌វេទិន " គឺនេះហើយឲ្យឃើញថា ពួកបរិស័ទក្នុងពុទ្ធសាសនាមានរបៀបរៀបរយល្អហើយ ៗ

ក្នុងជាន់ជាមួយនេះ មានកើតគុហា ជាដំបូងទាំងឡាយ នៅអជន្តា ( ហៃទេរប័ទ ) ហើយគុហាក្រោយនោះ កើតក្រោយ ៦០០ ឆ្នាំ ( ឆ្នាំ ៧០០ ) គុហាទាំងនោះសុទ្ធតែគុហាចំណែកខាងពុទ្ធសាសនាទាំងមូល តែគុហាខ្លះជារបស់ពួកហីនយាន ( ១០០ ឆ្នាំ មុនគ្រិស្តសករាជ ៣០០ ឆ្នាំក្រោយ ប) គុហាខ្លះទៀតជាពួករបស់មហាយាន ( ៦០០-៧០០ ) គុហាទាំងនោះមានចំនួន ២៩ មានចុះលេខពីទិសខាងកើតរៀងទៅទិសខាងលិច មានគុហាជាច្រើន ដែលមានរូបគំនូរគួរទឹងថ្នាំប្រេង គឺរូបព្រះពុទ្ធ រឿងក្នុងជាតក ៗ ល ៗ បណ្ដាសាលាវេទនាទាំងឡាយរបស់អ្នកស្រុកដែលបានបង្កើតឡើងមាន ជាប្រាសាទទាំងប៉ុន្មាន ដូចមាននិយាយ

ខាងលើ មានសាលាបេនា ១ កើតដោយគំនិតអ្នកប្រទេសនៅស្រុកកន្ធារ ខាងទិសពាយព្យ នៃស្រុកឥណ្ឌា ដែលគេហៅសព្វថ្ងៃថា សាលាបេនា គន្ធារ (១) សាលានោះមានផលប្រយោជន៍រុងរឿងឡើង សាលានោះ ជាងខាងពួកក្រិកបានបង្កើតហើយបានធ្វើហើយតំណាងជារូប និង រឿងការ ដែលមាននិយាយក្នុងអវទាននៃពុទ្ធសាសនា ដោយបែបសម្លៀកបំពាក់ ដោយបេសណ្ឋានដោយគ្រឿងប្រដាប់ ដែលជាគ្រឿងសម្គាល់ នៃក្បាច់ រចនាបេស់ក្រិក ទំនើបថ្មី ដែលសាលាបេនាគន្ធារបង្កើតឡើង ឲ្យជ្រួត ជ្រាបចូលទៅក្នុងលោក គឺទំនងព្រះសម្ពុទ្ធ ។

តាំងពីដើមមកពួកជាងមិនអាចហ៊ាន ធ្វើរូបតំណាង ព្រះសម្ពុទ្ធនោះ ឡើយ ធ្វើតែបល្ល័ង្កទទេក្រោមដើមពោធិព្រឹក្ស សម្គាល់ថាព្រះពុទ្ធបាន សម្រេចជាព្រះសម្មាសម្ពុទ្ធ បល្ល័ង្ក ១ ទៀតមានចម្លាក់ជាកង់នៅកណ្ដាល សត្វឈ្លូសពីរ សម្ដែងឲ្យឃើញថា ព្រះពុទ្ធសម្ដែងធម្មចក្រនៅម្រឹគទាវ ជណ្ដើរ ១ មានស្នាមព្រះបាទពីរគេនិយាយថា ព្រះពុទ្ធយាងចុះពីត្រៃ ត្រឹង្សទៅកាន់សង្កាស្ស គ្រឿងសម្គាល់នេះមានញឹកញាយ ហើយជាទីកប់ អាននៅឡើយ ។

ព្រះពុទ្ធបដិមាករដែលបានកើតឡើងហើយ ក្នុងប្រទេសឥណ្ឌាប៉ែក ខាងជើង ហើយផ្សាយទៅក្នុងប្រទេសប៉ែកខាងកើតបំផុត នៅមានគេ

---

១- មើលសៀវភៅ អ ហ្វូសេ អំពីក្បាច់រចនាបេស់ក្រិកដែលជាប់លាយ ដោយក្បាច់រចនា ខាងពុទ្ធសាសនានៅស្រុកគន្ធារ ប៉ារីស ១៩០៥-១៩២២-២ វ៉ុល (បោះពុម្ពផ្សាយចេញអំពី សាលាបារាំងសែស ឯក្រែស្ត្រមអូរិយ៉ង់ ។

គោរពរាប់អានដរាបដល់សព្វថ្ងៃនេះ តែរូបនោះក្លាយទៅបន្តិច ៗ

X

X X

## បរិច្ឆេទទី ៦

## អំពីរាជ្យស្តេចកនិស្ក ទៅដល់ រាជវង្សស្តេចគុប្ត

## [គ្រិស្តសករាជ ៧៨ ដល់ ៣២០]

កុសាណ គឺជាវង្សស្តេចសោយរាជ្យនគរតុខារ ដែលចិនហៅថា យូរេ ទៅក្នុងរាជ្យស្តេចកុជូលកាត់ហ្វីសេស ឬកាត់ហ្វីសទី ១ នោះពួកកុសាណ ដេញពួកសក ពីស្រុកអាហ្វហ្គានិស្ថានខាងត្បូងបាន (គ្រិស្តសករាជ ២៥-៥០) ហើយកាលក្នុងរាជ្យវិមកាត់ហ្វីស ឬកាត់ហ្វីសេសទី ២ ជាកូនពួកកុសាណ យកបានតំបន់ពាយព្យ នៃស្រុកឥណ្ឌា (គ្រិស្តសករាជ ៥០-៦០) ហើយដេញពួកសកលុះដល់ត្រើយសមុទ្រខាងលិច រួចបានពួកតាំងនេះតាំងវង្សនោះ ហៅថាក្សត្រិយ៍ (១) តពីកាត់ហ្វីសេសទី ២ មក មានមហាក្សត្រិយ៍ ១ អង្គគ្រងរាជ្យតំណក្នុងវង្សកុសាណ ព្រះនាម កនិស្ក រាជ្យស្តេចនេះប្រហែលជាចាប់ឡើងជាមួយនឹងសករាជពួកសកដែរ គ្រិស្តសករាជ ៧៨ ហើយតទៅ បានពី ២៤ ដល់ ៣០ ឆ្នាំ លុះដល់គ្រិស្តសករាជ ១០៤ ស្តេចកនិស្ក កាន់កាប់ត្រួតត្រាគេយ៉ាងធំ រាប់ចូលទាំង

---

១- ពួកក្សត្រិយ៍ខាងលិច គឺមានពួកនហបាន ប ១០០ ១២៦ (ចស្តន ប.១៣០ រុទ្រទាម័ន ប.១៥០) ជាដើម ហើយដែលមានទីក្រុងនាឧជ្ជយិនិ ដែលចន្ទ្រគុប្តទី ២ បំផ្លាញកាលពីឆ្នាំ ៣៩៥អា.ទ ។

អាហ្វយា និស្តង់-បន្ទិ បញ្ចាប់ និង កស្មៀរ ស្តេចនេះបានតាំងក្រុងនៅបុរុសបុរ (បេសាវ៉រ) វេលាដែលបានចូលកាន់ពុទ្ធសាសនាហើយ ស្តេចនេះបានសាងនូវស្តូបជាច្រើន មួយអង្គទីងវត្តអាកម ស្តូបដែលល្បីឈ្មោះជាងគេនោះ គឺស្តូបនៅ បុរុសបុរ ដែលបានបញ្ចុះព្រះសារីរិកធាតុនៅក្នុងទីនោះ កាលពីឆ្នាំ ១៩០៩ នោះ គេបានរកឃើញស្តូបជាមួយនឹងកោដ្ឋ នៅភូមិសា-ជី-កិ- ទេហ្រិ ជិតបេសាវ៉រ កោដ្ឋនោះគឺជាប្រអប់កែវតូច ១ មានអដ្ឋិ ៣ ដុំក្នុងនោះ (១) ហើយឯប្រហោងនោះគេបិទជិតដោយដីឥដ្ឋ មានត្រារូបដំរី កោដ្ឋនោះគេឃើញដាក់នៅក្នុងខ្វង់ស្ពាន់ ១ ការខ្សែមាស នៅគ្របមានចម្លាក់ជារូប ៣ ត្រង់មូលគឺព្រះពុទ្ធរូបមានរស្មី ១ គង់ជាកណ្តាលពោធិសត្វ ២ ព្រះអង្គឈរអម ឯតួមេខ្វង់នោះមានព្រះពុទ្ធរូប ៣ អង្គគង់លើកម្រងផ្កា ១ ពីក្រោមហើយនិងរូបកនិស្កឯង ១ មានទុកអក្សរទេវកេស្តិ ៤ បន្ទាត់នៅលើកោដ្ឋនោះ គឺ ២បន្ទាត់ (ដែលមើលច្បាស់តែ ១បន្ទាត់) នៅលើគ្របហើយ ២ បន្ទាត់ទៀតនៅលើមេ ឯអក្សរទាំងនោះដូចខាងក្រោយនេះ ។

១. អរិយធំ សរិស្តិវធិធំប្រតិគ្រយោ

“ សូមអាចារ្យសព្វាស្តិកទិន ទទួលយក ”

២ . . . កនិស្ក . . . .

---

១- ព្រះអដ្ឋិទាំង ៣ ដុំនោះ គេបានឲ្យទៅឯស្រុកភូមាដែលជាស្រុកកាន់ព្រះពុទ្ធសាសនា ដើម្បីឲ្យរក្សាទុកក្នុងវត្ត ១ នៅក្រុងមន្តលេ ។

## ៣ ខេយដមោ សរិសត្វុងករត្តុ

" សូមឲ្យការដ៏ប្រសើរនេះបានចម្រើនដល់គ្រប់សត្វទាំងអស់ "

### ៤. ឧសរអតិសលជាតាមកាឧស្តុសវិហារមហាសេន សង្ឃារាម

ឈ្មោះអគ្គិសល ជាមេការក្នុងវិហារកនិស្កក្នុងសំឃារាមនៅមហាសេន ។

អគ្គិសលនោះ គឺប្រហែលជាជាងក្រិចឈ្មោះអគេសិល ដែលជាអ្នកបម្រើស្តេចកនិស្ក ស្តេចដែលថ្វាយនូវកោដ្ឋនេះដល់ពួកសព្វាស្តិវាទិន នោះនាំឲ្យឃើញថា ពុទ្ធសាសនានេះ កាលក្នុងរជ្យស្តេចកនិស្កនៅថ្កុំថ្កើងរុងរឿងនៅឡើយ ដោយគ្រាប់តាមស្តេចអសោក ស្តេចកនិស្កចង់បំបាត់នូវសេចក្តីចម្រូងចម្រាសក្នុងផ្លូវធម៌អាថ៌ ដែលនាំឲ្យចលាចលក្នុងវត្តអារាមហើយនាំឲ្យបែកជា ៨ ពួកនោះ ក្នុងស្ថាននេះកនិស្កបានរៀបប្រជុំសង្គាយនាតាមសេចក្តីទូន្មានពីបាស្វ ឯសង្គាយនានោះតាមអ្នកខ្លះគេថាធ្វើក្នុងអារាមកុណ្ឌលវ័ននៅនគរកស្មីរ ហើយតាមអ្នកខ្លះទៀតថាបានលើកនៅក្នុងអារាមកុវ័ន នៅប្របស្រុកជាលន្ធរ (នគរបញ្ជាប) ក្នុងសម័យនោះមានព្រះអរហន្តចំនួន ៥០០ អង្គ ហើយមានបាស្វ និង បូណ៌ជាអ្នកឈ្លៀវឆ្លាតជាងគេ ទៅប្រជុំក្នុងអធិបតីនៃវសុមិត្រ ក្រុមជំនុំនេះបានផ្ទៀងផ្ទាត់ជាថ្មីនូវគម្ពីរដីកាទាំងអស់ហើយតាំងបង្កើតជាអដ្ឋកថាក្នុងបិដកនីមួយ ៗ ៖

១- ឧបទេសសាស្ត្រ អំពីសូត្របិដក

២- វិនយវិភាសាស្ត្រ អំពីវិន័យបិដក

៣. អភិធម្មវិភាសាស្ត្រ អំពីអភិធម្មបិដក

លោកជាអធិបតីក្នុងការសង្គាយនា បានចាត់ឲ្យទៅរកអស្សឃោស ដើម្បីរចនាជាក្បួនវិភាសា មហាក្សត្រិយ៍បានឲ្យឆ្លាក់បិដកទាំង ៣ នោះ លើផែនស្ពាន់ ហើយបញ្ចុះក្នុងស្តូប ១ ក្នុងកាលនោះបិដកទាំង ៣ នោះ បានចារិកជាភាសាសំស្ក្រឹត តាមធម៌ពួកសព្វាស្តិវាទិន ដែលជាពួកមានអំណាចជាងគេ ក្នុងស្រុកឥណ្ឌាខាងជើងក្នុងជាន់នោះ សង្គាយនានេះ ពួកថេរវាទនៅកោះលង្កា ( សីហ្លន់ ) មិនបានដឹងទេ ។

តាមអវទានថា ស្តេចកនិស្កនេះ គឺបណ្តាក្សត្រដែលនៀយណាយ ទីងសង្គ្រាមជានិច្ច សម្លាប់ ។

តាមរឿងរ៉ាវតៗមកថា ក្នុងរាជកនិស្កនោះ អ្នកដែលពូកែបំផុតក្នុងរបៀបពុទ្ធសាសនា គឺអស្សឃោស (១) អស្សឃោសនេះ កាលដើមគាត់

---

១- រឿងរ៉ាវ ស. ឡេវី. អស្សឃោស សូត្រាលង្ការ និង ពោលដើម ជ, ១៩០៨, ខ្សែ ២ ទំព័រ ៥៣, ពុទ្ធចរិតនោះ កូវែលបានប្រកាសហើយបានប្រែ (អាណេកដុកតាអក្សោនិអងស្ស្រ, ១៨៩៣, និង សារប្រេប៊ុក អ្នហ្វ៍ បេអាស្ត៍, លេខ ៤៩ ឆ្នាំ ១៨៩៤) ហ្វូរីសីបានប្រែជាភាសាពិតាលី, អស្សឃោស, ប៉ូអេតាពេលីតូរីយ៉ូ, បារីសឆ្នាំ ១៩១២ (បេអ៊ីល បានប្រែចេញពីចិន សៀវភៅលេខ ១៩, សូត្រាលង្ការ (ភាសាចិន) អេដ. ហ៊ូប៊ែរបានប្រែចេញជាភាសាបារាំងសែស, បារីសឆ្នាំ ១៩០៨ លោកលូ កាវ៉ូនោះបោកព្រះរាទសត្រ៍បានរកឃើញ ហើយបានបោះពុម្ពផ្សាយចេញ (កាលពីឆ្នាំ ១៩១០ ហៅសៀវភៅ នៅស្រុកឥណ្ឌា) ។

សេចក្តីអធិប្បាយ ត្រ៊ី, ១៩១២ ទំព័រ ១០, លេខ ១៩, ទំព័រ ៣៩, និង ជ្រ ១.១១១ ទំព័រ ១ ១២៤ អធិប្បាយ អ. ផេរ៉េរ ។

សាសនាឥស្សរយ៉ាងមាំ ហើយចូលកាន់ពុទ្ធសាសនាវិញ ដោយអំណាចប៉ាស្វិនាំ ហើយក៏ល្បីឮ ឈ្មោះដកបដល់ស្តេចកនិស្កទៅវាយយក ក្រុងសាកេត (គឺស្រុកអ៊ូធ) ឥតមានរួញរា ដើម្បីនឹងនាំយកទៅនូវអស្សឃោស ទុកជាកវីបណ្ឌិតជាទីប្រឹក្សារបស់ព្រះអង្គ បណ្ដាអ្នកដែលស្ទាត់ខាងឯគាត់តែងរឿងក្នុងព្រះពុទ្ធសាសនានោះ គឺ អស្សឃោសនេះឯង ជាអ្នកពូកែ ១ ហើយជាអ្នកកាន់ពួកសព្វាស្តិវាទិន ដែលជាក្រោយមកត្រឡប់ទៅស្ម័គ្រនឹងពួកមហាយានវិញ នេះមានហេតុអ្វីនឹងសម្គាល់ឱ្យឃើញបាន ដោយហេតុនេះ មិនគួរគេជឿថា មហាយានស្រទ្ធោត្បាទសាស្ត្រ ជាស្នាដៃរបស់អស្សឃោសនេះឡើយ ប៉ុន្តែអស្សឃោសនេះ ពិតជាបានតែងរឿងក៏ដូចមានខាងក្រោយនេះ ៖

ពុទ្ធចរិតគាថាសម្ដែងពីចរិតព្រះពុទ្ធជាម្ចាស់ ។

សោន្ទរនន្ទកាព្យគាថា សម្ដែងពីសេចក្តីចុះចូលនៃនន្ទ ។

សូត្រាលង្ការរឿងរ៉ាវជាទីគណាបគម្ពុ ដែលមានតែសេចក្តីប្រតិចិនមក លើកចេញតែវិភាគ ៣ (១៦, ២៧, ៥៤) អំពីរឿងស្តេចអសោក និង ឧបគុប្តដែលជាកវីបណ្ឌិតដែលគេបញ្ចូលទៅក្នុងទិវ្យាវទាន (ទំព័រ ៣៥៧ ចាំនឹងឧបគុប្តទំព័រ ៣៨៦ និងរឿងយស ទំព័រ ៤៣... អំណោយថ្វាយមាលក (ស្រមោ) ១ ចំហៀង ។

អស្សឃោស បានតែងរឿងល្ខោនជាច្រើន ដែលគេបានរកឃើញ

បំណែកខ្លះរឿងក៏រៀបអំពីអស្សឃោសនាំឲ្យយើងដឹងថាលោកនេះ បានតែងរឿងល្ខោន "រាស្ត្របាល" នៅបាដលិបុត្រ ហើយល្បីឈ្មោះ មនុស្សចុះចូលច្រើន លុះដល់មានសេចក្តីបញ្ញត្តិហាម ដើម្បីបង្ការក្រែងបណ្តារាស្ត្រទាំងអស់ក្នុងក្រុងនេះទៅនៅជ្រកកោនក្នុងសាកម ។

គឺនៅក្នុងពេលកនិស្កហើយ ដែលមានកើតហេតុយ៉ាងធំ ១ ក្នុងពុទ្ធសាសនាមានបំបែកពួកសង្ឃបែកជា ២ ពួក គឺហីនយាន និង មហាយាន ។

## អំពីមហាយាន

មហាយានជាពួកធម៌ថ្មីដែលគេប្តូរគ្នា ជាគួរបដិបក្សនឹងហីនយាន ឬ ពុទ្ធសាសនាដើម (១) នោះ ប្រហែលជាទទួលបែបផែនមកពីនាគាជ៊ុន ដែលកើតក្នុងពាក់កណ្តាលគ្រិស្តសករាជឆ្នាំ ២០០ ខាងដើម (២) ឯលក្ខណៈមហាយានដែលប្លែកពីហីនយាននោះ មានសេចក្តីដូចមានខាងក្រោយនេះ ។

---

១- ពាក្យដែលថាមហាយាន និង ហីនយាននេះ មានន័យស្មើនឹងថា «រទេះធំ» និង «រទេះតូច» រទេះទាំងនេះ គឺជាយាននិងនាំ ដែលនាំសត្វទៅកាន់និព្វាន ដូចគេហៅថា ពោធិសត្វយាន (គឺមហាយាន) និងស្រាវកយាន (គឺហីនយាន) ដែលនាំទៅ «ធំ» និង «តូច» នោះ គឺពួកដែលបានបំបែកមុនហៅឡើងដោយគិតល្អិតយកឈ្មោះរបស់ខ្លួន ។

២- ក្នុងពង្សាវតារថាពួកនេះកើតនៅវេលាដែលកនិស្កលើកសង្គាយនា ។

១- ហីនយានផ្គងឡើងថា សេចក្ដីប្រាថ្នារបស់មនុស្ស គឺអរហត្ត ផលរួចបានព្រះនិព្វាន ឯមហាយានវិញផ្គងឡើងថា សេចក្ដីប្រាថ្នា របស់មនុស្ស គឺជាពោធិសត្វ រួចទើបបានជាសម្មាសម្ពុទ្ធ ។

២- តាមហីនយានថានិព្វាន នោះបានដោយបុញ្ញកិរិយាវត្ថុ ឯមហាយានថាដោយសទ្ធា និងសេចក្ដីជ្រះថ្លាក្នុងព្រះពុទ្ធមានព្រះពុទ្ធអមិតាភ ជាដើម ។

៣- តាមហីនយាន ថាទីព្រះអរហន្តនោះបានដល់តែភិក្ខុទេ ឯ មហាយាន ថាទោះជាយកកាស់ក៏គង់បានដល់ទីពោធិសត្វដែរ ។

៤- ហីនយាន ប្រដៅថាឲ្យធ្វើការកុសល យកប្រយោជន៍របស់ ខ្លួន ដើម្បីឲ្យបានខ្ពង់ឧត្តមសុខដល់ខ្លួន ឯមហាយានវិញថាត្រូវផ្សាយ ផលកុសលដល់អ្នកដទៃអំពីបុញ្ញកម្មរបស់ខ្លួន ។

៥ ក្នុងគំនិតក្នុងមហាយាន ថាព្រះពុទ្ធទាំងឡាយ ជាឧត្តមសត្វ ធម្មតាផ្សាយពេញពាសគ្រប់កន្លែង ប្រៀបដូចជាព្រះពុទ្ធ វៃរោចនៈ និងអមិតាភ អមិតាភនេះ នៅទិសខាងលិចក្នុងស្ថានសួគ៌ ក៏ឈ្មោះ សុខាវតី ។

៦- ព្រះពុទ្ធ ១ មានកាយ ៣ កាយ ១ ហៅថាធម៌ កាយគឺកាយ ព្រះធម៌ បានដល់ពោធិ ឬ និព្វាន កាយមួយទៀតហៅថា សម្ភោគកាយ គឺកាយដែលប្រកបដោយសិរីសួស្ដី ដែលព្រះពុទ្ធស្ថិតនៅក្នុងស្ថានសួគ៌

៣, កាយមួយទៀត ហៅថានិម្មានកាយ គឺកាយជារបស់មនុស្ស ។

៧. មានមហាពោធិសត្វជាច្រើនដែលមិនចូលនិព្វាន ហើយនៅក្នុងលោកយើងនេះ ដើម្បីធ្វើការជាប្រយោជន៍ដល់សត្វ ឯពោធិសត្វទាំងនេះមានដើមគឺ អវលោកិតេស្វរ ឬ បទ្មបាណិ ឬ លោកិតេស្វរ គឺជាពោធិ-សត្វសង្គ្រោះនិងឲ្យសុខសប្បាយ មញ្ជុស្រី គឺពោធិសត្វធ្វើឲ្យស្លូតតាមយុត្តិធម៌ ដែលគេធ្លាប់ឆ្លាក់រូបសីមា ហើយកាន់សៀវភៅ ១ និងព្រះខ័ន ១, សម ន្តភទ្រ គឺពោធិសត្វអាណាព្យាបាលអ្នកកាន់សាសនា ដែលគេធ្វើជារូបគង់លើដំរី, មៃត្រេយ គឺព្រះពុទ្ធជាអនាគតខាងក្រោយដែលនៅរក្សាសេចក្ដីផ្សាយនៃសាសនា, ក្សិតិគភ៌ គឺពោធិសត្វដែលស្រង់ពីស្ថាននរក, វជ្របាណិ គឺពោធិសត្វដែលមាន មានវជ្រ (រន្ទះ) ជាអាវុធ ក្នុងដៃដើម្បីការពារទូវសាសនា លោកិតេស្វរមានកល់យាឈ្មោះតារា (អ្នកស្រោចស្រង់), ប្រាជ្ញាបារមីតា (ប្រាជ្ញាយ៉ាងឧត្ដម) នេះមានខ្លួនជាមនុស្ស ហើយត្រឡប់ទៅជានាងទេវធីតា ។

៨. មហាយានមានគម្ពីរផ្សេងៗជាច្រើន គឺសុខមីបុណ្ឌរីក សូត្រអមិតាភសូត្រ សុវណ្ណប្រភាស លង្កាវតារ ។ល។

៩- ពួកនេះមានសេចក្ដីជឿ ទៅក្នុងកិរិយាគោរពបូជាអានដល់រូបក្នុងពិធីបុណ្យផ្សេងៗក្នុងការសូត្រធម៌និងក្នុងពិធីវៀនអាគម ។

ធម៌អាថ៌របស់មហាយាននោះគង្វង់ឆ្ងាយណាស់មកហើយ ហើយ

ប្រាកដថា បានផ្សាយខ្លួនទៅក្នុងតំបន់ទិសពាយព្យនៃស្រុកឥណ្ឌាកាលក្នុងរាជ្យកនិស្ក ប៉ុន្តែប្រហែលជានាគាជុនបានបង្កើតបែបផែនជាដំបូង នាគាជុននេះ បានបង្កើតសាលាមាធ្យមិក ហើយបានផ្សាយធម៌ក្នុងមហាប្រាជ្ញាបារមិតាសាស្ត្រ (ដែលមានតែជាភាសាចិន) និងក្នុងមាធ្យមិកសូត្រ អ្នកតែងឈ្មោះឡាវឡេពួស្ស៊ីន ក្នុងពោះសៀវភៅរឿងពុទ្ធសាសនា ។

ទេវ ឬ អារ្យបានប្រតិបត្តិតាមនាគាជុន ហើយមានសិស្ស ១ ឈ្មោះធម៌ត្រាត ដែលបានប្រមូលនូវគម្ពីរដីកា ជាពាក្យឃ្លាសំស្ក្រឹតមកជាគម្ពីរ ១ ហៅថា ឧទានវគ្គ ដែលនាំសេចក្តីដូចជាធម្មបទ បាលីជាច្រើនកន្លែង ពួកអ្នកប្រាជ្ញទាំងនេះ កើតឡើងក្នុងរាជ្យស្តេចកុសាណ ដែលគ្រងរាជ្យតំណាលក្រោយកនិស្ក (គ្រិស្តសករាជ ១៥០-២២០) តពីរាជ្យស្តេចទាំងនេះទៅនោះ រឿងក៏គ្មានដំណឹងទៅទៀតឡើយ លុះដល់មករាជ្យស្តេចគុប្ត គ្រិស្តសករាជ ៣២០ (អ.វ.) ។

ពីក្នុងសករាជនេះហើយ (ឆ្នាំ ៤០០) ដែលគេបានសាងស្រេចនូវព្រះស្តូបដ៏ធំ នៅតាមត្រើយស្ទឹងក្រិស្នាខាងត្បូង ចម្ងាយប្រហែល ១៥០ គីឡូម៉ែត្រពីសមុទ្រ ស្តូបនោះមានឆ្លាក់ជាក្បាច់ដ៏វិចិត្រ ដែលសព្វថ្ងៃនេះ ផ្សាយខ្លួនទៅក្នុងមន្ទីរតាំងរបស់ស្រុកឡុងដ៍ ស្រុកមទ្រ និងកាល់គុត្តា គេឃើញមានព្រះពុទ្ធរូបដែលធ្វើតំណាងជាច្រើន ហើយនិងរឿងក៏ក្នុងជាតិព្រះអង្គ (ចេញពីពំង ។ល។) នៅមន្ទីរតាំងនោះ ។

# បរិច្ឆេទទី ៧

## តពីរាជ្យពួកគុប្តនៅដល់ផុតឆ្នាំ ៧០០

សេចក្តីចម្រើនក្នុងពុទ្ធសាសនា  មានកើតឡើងជាថ្មីនៅក្នុងដើមឆ្នាំ ៤០ ដោយអសង្គនិងវសុពន្ធុទាំង ២ នាក់បងប្អូន (១) ។

ក្នុងកាលនោះធម៌អាថ៌មានក្នុងស្រុកឥណ្ឌាគឺ ១ នៅក្នុងពួកហីនយាន មានគម្ពីរ ២ ដែលរៀបចំតាមសព្វាស្តិវាទិន គឺ៖ ក) ពួកវៃភាសិក ដែលមានក្នុងស្រុកកស្មីរ ហើយមានរៀបរៀងក្នុងកាលនៃ ចតុត្ថសង្គាយនា, ខ) គឺពួកសៅត្រាន្តិកដែលកាន់តាមលទ្ធិសូត្រាន្ត ពួកទាំង ២ នេះ ជឿដូចគ្នា ថាសង្ខារលោកនោះមានមែន តែមកប្លែកគ្នាត្រង់កន្លែងនេះ គឺ ពួកវៃភាសិក ជឿដល់សេចក្តីឃើញផ្ទាល់នៃសេចក្តីផ្សេង ៗ ឯពួកសៅត្រាន្តិកវិញ អធិប្បាយថាវត្ថុផ្សេង ៗ ដែលនឹងប៉ះពាល់ដល់ចក្ខុប្រសាទនោះ មិនមែនផ្ទាល់ទេ គឺដោយមានរូបជាតំណាង ។

២. ក្នុងពួកមហាយាន នោះបែងមាធ្យមិក ដែលនាគាជុនបង្កើតនោះ (គឺផ្លូវកណ្តាល) គឺជាចន្លោះសេចក្តីពិតនិងមិនពិត គឺថាជាទទេវិញ (សូន្យតា)

---

១- មើលសៀវភៅ ន. បេរី អំពីកាលនៃ វសុពន្ធុ, ប៊ុល្លីតងសាលាបារាំងសែសអេកស្ត្រែម អូរីយង់ ខ្សែ ១១ ទំព័រ ៣៣៩ ។

អសង្គ ជាអ្នកបង្កើតថែប ១ ថ្មី គឺយោគាចារ ដែលបង្ហាញឲ្យដឹងនូវសេចក្តីថាលោកនេះគ្មាន មានតែវិញ្ញាណ ហើយសម្តែងអំពីការប្រតិបត្តិនូវធម៌ជាសុខុមល្អិត (យោគ) ដើម្បីឃើញនូវសេចក្តីពិត អសង្គនេះបានតែងនូវមហាយានសូត្រាលង្ការ ដែលមានសេចក្តីយល់ឃើញសុទ្ធតែពាក្យការិកា (គាថា) ហើយក្នុងគាថាមួយ ១ សុទ្ធតែមានអដ្ឋកថាគឺសេចក្តីពន្យល់របស់អ្នកតែងខ្លួនឯង (១) ។

វសុ-ពន្ធុ រស់នៅប្រហែលតាំងពីឆ្នាំ ២៨០ ទៅដល់ ៣៦០ ក្នុងរាជ្យស្តេចចន្ទគុប្តទាំង ២ អង្គ ជាបងប្អូនវសុពន្ធុនោះ កាលដំបូងជាពួកសព្វាស្តិវាទិន លុះបានសិក្សាវិជ្ជា ពីសង្ឃភទ្រនៅស្រុកកស្មីរ ហើយក៏បានទៅនៅឯអយោធ្យា ហើយបានតែងគម្ពីរអភិធម្មកោស ជា ៦០០ ការិកា ហើយផ្ញើទៅឯស្រុកកស្មីរ ដោយពួកអ្នកប្រាជ្ញនៅស្រុកកស្មីរបានអារាធនា, វសុ.ពន្ធុ ក៏បានតែងនូវគម្ពីរអដ្ឋកថា ១ ឈ្មោះអភិធម៌កោសសាស្ត្រជាគម្ពីរសម្រាប់ពន្យល់ឬអធិប្បាយនូវគម្ពីរអភិធម៌កោសនោះ តែពួកអ្នកប្រាជ្ញទាំងនេះ មិនពេញចិត្តដោយមានទាស់ខ្វះ អ្នកតែងចូលចិត្តសេចក្តីរបស់ពួកសៅត្រាន្តិក ជាងរបស់ពួកវៃភាសិក វសុ-ពន្ធុតាមសេចក្តីទូន្មានរបស់អសង្គជាបង ក៏បានចូលទៅកាន់ពួកមហាយាន ហើយក៏បានតែងសេចក្តីអធិប្បាយពន្យល់អំពីសូត្រ ឬសេចក្តីបញ្ញត្តិពួកនោះជាច្រើន មានគម្ពីរ ១ ឈ្មោះសតសាស្ត្រជាអដ្ឋកថានៃគម្ពីរ ១ ជា

---

១- អ្នកតែងនិងអ្នកប្រែឈ្មោះ ស-ឡេវី សៀវភៅ លេខ ១៨៩,១៩០ ។

ស្លាដៃរបស់គេ ហើយមានគម្ពីរ ទៀតឈ្មោះពោធិចិត្តត្បាទនសាស្ត្រ គម្ពីរទាំង ២នោះ បាត់បង់ដើម ប៉ុន្តែនៅមានតែសេចក្តីប្រែ ដែលកុមារជីវបានប្រែកាលពីឆ្នាំ ៤០៤ និង ៤០៥ វសុ·ពន្ធុធ្វើកាលកិរិយាទៅក្នុងអាយុ ៨០ឆ្នាំ នៅក្រុងអយោធ្យា ខ្លះនិយាយថាស្លាប់នៅនេប៉ាល់ តាមតារាង (ចំពូក ៣៩) ថាពួកសិស្សនៃវសុ·ពន្ធ បានផ្សាយនូវធម៌ពួកមហាយានមកក្នុងកំឡុង ស៊ុងដូស៊ីន ។

រឿងរ៉ាវទាំងឡាយក្នុងពុទ្ធសាសនា តពី វសុ·ពន្ធុ មកនោះ យើងមានកិច្ច ត្រូវជាប់និយាយដល់អ្នកដំណើរជាតិជាចិន ដែលបានចូលទៅក្នុងស្រុកឥណ្ឌាពីឆ្នាំ ៥០០ ទៅឆ្នាំ ៧០០ ឯពួកទាំងនោះគឺ:

ហ្វា·ហៀន (៤០៥·៤១១)

សុង យុន និង ហ្វយ·សេង (៥១៨-៥២១)

ហៀន-ត្សង (៦២៩·៦៤៥)

យី-ត្សិង (៦៧៦·៦៩៥)

អំពីដំណើរ ហ្វា-ហៀន[1] ហ្វា-ហៀន ចេញពីស្រុកចិន កាលពីឆ្នាំ ៣៩៩ ហើយចូលទៅស្រុកឥណ្ឌា តាមទូកស្ពង តាមសេចក្តីសម្គាល់របស់ ហ្វា-ហៀនជាពួកហីនយានក្នុងជាន់នោះ មាននៅក្នុង

---

១- ហ្វូ គួយ គី "ស្ពានមេត្រីនិងស្រុកកាន់ពុទ្ធសាសនា" របស់ ហ្វា-ហៀន នោះឈ្មោះ អ ពេមុយសាត៍បានប្រែ (១៨៣៦)

តំបន់ឡូបនរ ហើយឯពួកមហាយាននៅស្រុកនាគន នៅក្នុងប្រទេស ស្រុកកស្មិរនិងឧទ្យាន (ស្វ៉ាត) ពួកអ្នកបួសទាំងអស់ សុទ្ធតែពួកហីន-យានមានចំនួនអ្នកបួសជាច្រើន នៅគន្ធារ ពួកទាំង ២ ដែលនៅបញ្ចប់ និងនៅមថុរា មានកម្លាំងស្មើនឹងប្រហែលគ្នា នៅក្នុងក្រុងខាងក្រោយនេះ ពួកគ្រូនៃពួកមហាយាន បានរៀបចំជាដល់ប្រាជ្ញាបារមីតា ដល់មញ្ជុស្រី និង លោកេស្វរ ក្នុងដែនកោសល នៅមានពួកទេវតាជាច្រើន ដែលទទួលស្គាល់តែព្រះពុទ្ធ ៣ ព្រះអង្គដែលកន្លងទៅហើយ តែមិនទទួលស្គាល់ព្រះសក្យមុនីឡើយ ។

នៅដែនមគធ ពុទ្ធសាសនាចំរុងចំរើនរុងរឿងល្អ នៅក្រុងបាដលិបុត្រ មានវត្ត ២ យ៉ាងធំ វត្ត ១ សម្រាប់ពួកហីនយាន វត្ត ១ ទៀតសម្រាប់ពួកមហាយាន រួមភិក្ខុទាំង ២ ពួកនេះទៅ បានចំនួន ៦០ - ៧០០អង្គ ហ្វា-ហៀនក៏បាននាំយកចិត្តទុកដាក់ ចម្លងនូវវិន័យផ្សេង ៗ បានដោយលំបាកណាស់ ព្រោះពួកពីរនេះ ប្រាប់ផ្ទាល់ពីមាត់ ប៉ុន្តែហ្វា-ហៀនបានឃើញនូវគម្ពីរវិន័យ ១ ដែលពួកមហាយានសំយកបានតែងនៅក្នុងវិហារពួកមហាយានក្នុងបាដលិបុត្រ ។

អំពីជាតិហុនចូលលុកលុយ ក្នុងដើមឆ្នាំ ៨០០ មានជាតិហ៊ុនស ឬហិផ្តាលិតដណ្តើមបានខេត្តសុគដ្យាន និងខេត្តបាគទ្រិយាន ពួកកុសាណ ហើយដណ្តើមបានស្រុកបេរ្យ ១ ចំណែកទៀតពីពួកសាស្សានិដ និងស្រុក

ឥណ្ឌា ១ ចំណែកទៀតក្នុងឆ្នាំ ៤៥៨ មានកើតបះបោរក្នុងស្រុកបញ្ចប់ទៀត ប៉ុន្តែសុទ្ធគុប្ត បង្ក្រាបបានវិញ តែសុទ្ធគុប្តនេះមានជម្ងឺឈឺទៅ វេលាកើតចលាចលជាថ្មីទៀត កាលក្នុងឆ្នាំ ៤៧០ ហើយទទួលមរណភាពក្នុងឆ្នាំ ៤៨០ ហើយនគររបស់ពួកគុប្តក៏រលាយទៅក្នុងឆ្នាំនេះ ពិតមែនតែនគរបានតាំងតមកជាយូរអង្វែងដូចដែលមកដល់ក្នុងឆ្នាំ ៥០០ ពួកជាតិហ៊ុន ដោយមានឈ្មោះតោរមានជានាយក ក៏ចូលទៅរុករានកាន់ស្រុកអាហ្វហ្គានិស្ថាន បញ្ចប់ទឹងមល្លៈទៀត ឯមិហិរកុលជាកូនដែលគ្រងរាជ្យជំនួស (ពីឆ្នាំ ០៦០ ដល់ឆ្នាំ ៥.. ) បានបង្ហិនបំផ្លាញជាច្រើនទៅទៀត ហើយបញ្ចេញនូវសេចក្ដីកាចឲ្យឃើញក្នុងជាន់មេះ បានច្បាំងនឹងស្ដេច ១ពួកជាតិហិណ្ឌូក្នុងឆ្នាំ ៥២៨ ស្ដេចនេះក៏រត់ទៅស្រុកកស្មីរ ហើយបានគ្រងក្រាពួកនោះទៀត រួចពីនោះក៏បានទៅច្បាំងដណ្ដើមយកស្រុកគន្ធារ ហើយសម្លាប់ទាំងស្ដេចនិងព្រះរាជវង្សានុវង្សទាំងអស់ ស្ដេចនេះបានបង្ហិនផ្លាញក្នុងនគរទាំងអស់ ហើយកំទេចនូវប្រាសាទដុតនូវព្រះវិហារ ហើយសម្លាប់ភិក្ខុសង្ឃទាំងឡាយច្រើន មានអ្នកបួសជាច្រើនរត់ទៅពួនគ្រប់ស្រុកក្នុងតំបន់ខាងជុំស្រុកខាងកើត តិចក្នុងវេលានោះហើយដែលនាំពិធីមិត្តភាគទៅដល់ស្រុកចិន មិហិរកុលទទួលមរណភាពក្នុងឆ្នាំ ៥៤០ ហើយកម្លាំងពួកហ៊ុនលិចក៏អាប់ឱន នៅមានពួកទួក (ទួរ) មកវាយយកបានក្នុងរវាងឆ្នាំ ៥៦៣ ទៅឆ្នាំ ៥៦៧ ។

អំពីដំណើរសុង-យុន និង ហួយ-សេង ( ៥១៨-៥២៩ )(១) បាន ទទួលបញ្ជាពីសម្តេចក្សត្រិយានីមេម៉ាយ ឲ្យទៅកាន់ស្រុកឥណ្ឌា ដើម្បីរកនូវគម្ពីរ បាលីក្នុងសាសនា ព្រមទាំងយកដង្វាយទៅថ្វាយផង នោះ សុង-យុន និងគ្នាពាំងប៉ុន្មាន ក៏ចូលទៅក្នុងស្រុកឥណ្ឌា តាមផ្លូវខ្លះកើតស្តង អ្នកដំណើរទាំងនេះ បានដើរកាត់នគរពួកយេតហិផ្តាលិតឬហ៊ុន ដែលមានស្តេចឈ្មោះ "មិហិរកុល" មិនជាអ្នកកាន់ពុទ្ធសាសនាឡើយ ហើយ ចូលទៅក្នុងឧទ្យាន ទំនាបភ្នំស្វាត ស្តេចនគរនោះនិងបណ្តារាស្ត្រទាំងអស់កាន់ពុទ្ធសាសនាយ៉ាងមាំមួនណាស់ គេបាននាំទៅបង្ហាញទីដ៏ឧត្តមផ្សេងៗ ជាទីដែលជាលំនៅនៃព្រះវេស្សន្តរជាដើម តពីនោះទៅអ្នកដំណើរ បានចូលទៅក្នុងគន្ធារ ក្នុងនគរនោះ មានឧបរាជម្នាក់កាន់កាប់រាជការតាង នាមស្តេចពួកហិផ្តាលិត ឧបរាជនោះជាអ្នករឹងរូសព្រហើនកាច ហើយឥត មានសេចក្តីគួរសមអ្វីឡើយ ប្រមាថមើលងាយដល់ព្រះពុទ្ធសាសនា ដែល បណ្តារាស្ត្រនៅជាប់គោរពប្រតិបត្តិ ។ សុង-យុនបានទៅមើលក្រុងគន្ធារ លុះទៅដល់ប្រទល់ដែន ក៏ទទួលជាស្រុកនោះកើតចម្បាំងនឹងស្រុកកស្មីរ តពីនោះទៅគាត់ក៏បានចូលទៅក្នុងដែនតក្សសិលា រួចពីនោះទៅបេសាវរ ដែលនៅប្របក្រុងនោះ គាត់បានទៅមើលស្តូបលោរិយោគ (ស្បូលី) ឈ្មោះពាទ្យល់មិនកើត ដែលស្តេចកនិស្កបានសាង គេបានពណ៌នាថា

---

១- មើលរឿង សុង យុន ចូលទៅកាន់ស្រុកឧទ្យាននិងគន្ធារដែលឈ្មោះ (ឯជ. សាវ៉ាន) បានប្រែ ប៊ុល្លីតាំង សាលាបារាំងសែស អេកស្ត្រែមអូរីយង់ ខ្សែ ៣ ទំព័រ ៣៧៩ ។

ស្ដេចនោះ នៅវេលាដែលបានឃើញកូនក្មេងម្នាក់ កំពុងតែធ្វើស្តូប ១ ដោយអាចម៍គោ ក៏មានព្រះរាជហឫទ័យចង់ធ្វើស្តូប ដោយថ្មគ្របពីលើ ប៉ុន្តែស្តូបដែលធ្វើដោយអាចម៍គោនោះ ក៏លូតខ្ពស់ឡើងឯងដកបលុះដល់ កំពស់ ៤០០ ពីយ៉េ គឺ ១៣២ ម៉ែត្រ ហួយ.ចេង ក៏បានធ្វើជាគំរូស្តូបនោះ ១ ដោយស្ពាន់លាយសំណរ រួចពីនោះបានទៅមើលស្តូប ដែលបានសាង នៅកន្លែងដែលស្ដេចពួកសិពិបានសង្គ្រោះដល់សត្វព្រាប (នៅគិរក៉ែ, ប៊ុនេរ ) នៅនគរបោរ គេបានបង្ហាញនូវគុម្ពផ្សេងៗ សម្រាប់សាសនាគឺ ឧណ្ហិសជ័យង (ខ្នារ) ធ្មេញ និង សក់ព្រះពុទ្ធ អ្នកកាន់យកសាសនា ជាតិចិនតាំងនេះនៅ ២ ឆ្នាំក្នុងឧទ្យាន ហើយចូលទៅក្នុងនគរ (ឡូ.យ៉ាង) វិញ ក្នុងដើមឆ្នាំ ៥២២ បានយកសៀវភៅហិណ្ឌូ ១៧០ ក្បាលទៅដែល ហៅថាជាសៀវភៅពួកមហាយានទាំងអស់ ។

អំពីរាជហសិធ (៦០៦-៤៨) ហិសវេធិនបានគ្រងរាជ្យតំណក្នុងនគរ ថនេស្វរ៍ (ចម្ងាយ ១០០ មិលពីព្រំខាងជើងក្រុងទេល្ហិ) កាលពីឆ្នាំ ៦០៦ ស្ដេចហសិវេធិន យកបាននិគមខាងក្រោយនៃគង្គាទាំងអស់ គឺនិគមជា កណ្ដាលក្នុ ហិមាលយានិងនម្មទា ស្រុកឥណ្ឌាក្នុងកាលនោះបែកជានគរ ធំ ២ គឺស្ដេចហសិជាក្សត្រិយ៍គ្រងរាជ្យក្នុងស្រុកឥណ្ឌាខាងជើង ស្ដេច បុលិកេសិន (អំពីរាជវង្សស្ដេចកាលក្យ) ជាក្សត្រិយ៍គ្រងរាជ្យក្នុងស្រុក ឥណ្ឌាខាងត្បូង ។

ហសិជាអ្នកទ្រទ្រង់ពុទ្ធសាសនាយ៉ាងខ្មាំមួន ហើយបានតាំងថ្វាយ

ខ្លួនក្នុងពុទ្ធសាសនាកាន់យកនូវក្រឹត្យជាឧបាសកយ៉ាងមាំ ១ ដោយត្រាប់តាមស្តេចអសោកនោះ ព្រះអង្គបានសាងនូវរោងព្យាបាល និងព្រះវិហារ ព្រមទាំងស្តូបជាច្រើន បានហាមមិនឲ្យសម្លាប់សត្វយកសាច់បរិភោគឡើយ ព្រះអង្គបានចាត់ចែងការត្រួតត្រា ក្នុងពុទ្ធសាសនាយ៉ាងមាំមួន ហើយឲ្យរង្វាន់ដល់អ្នកបួសដែលគួរទទួលរង្វាន់បាន ព្រះអង្គបានចំណាយព្រះរាជទ្រព្យ ដែលទុកក្នុងឃ្លាំងធ្វើជាទាន ក្នុង ៥ ឆ្នាំ ធ្វើម្តងជាដរាប អ្នកដំណើរជាតិជាចិនឈ្មោះ ហៀន ត្សង់ បានចូលទៅក្នុងក្រុងកន្យាកុព្ជា (កនោជ) ហើយបានប្រទះគេធ្វើបុណ្យហែព្រះពុទ្ធរូបមាស ១ អង្គលើខ្នងដំរី ១ ហើយស្តេចហស៌តែងខ្លួនជាឥន្ទ្រកាន់ក្ងោះនៅខាងស្តាំ ខាងឆ្វេងបានស្តេចនៅក្រុងកាមរូប (អស្សម) ព្រះរាជកុមារតែងខ្លួនជាព្រហ្មកាន់សែពិធីបុណ្យនេះមានចែកនូវទានកំណត់ ៥ ឆ្នាំម្តងនេះជាលំដាប់ នៅក្រុងប្រយាគ (អល្លាហបាទ) ហស៌ ជាអ្នកតែងរឿង ក្នុងព្រះពុទ្ធសាសនាជាច្រើនក្នុងរឿងទាំងនេះ គេស្គាល់ឃើញមានរឿង ÷

នាគានន្ទ (១) គឺរឿងបទបែបដែលដកយកពីជាតក ១ មកជាទីស្តោត្រគោរពដល់ស្តូបធំៗ ទាំង ៨ នៅស្រុកឥណ្ឌា (អស្តមហាចេតិយ វន្ទនំ)(២) ហើយមានបទធម៌មួយទៀត សម្រាប់សូត្រគោរពព្រះពុទ្ធ (សុប្រភាត

---

១- សេចក្តីប្រែរបស់បែរតែញ បារីស ១៨៧៩ ។

២- មានតែក្នុងសៀវភៅចិន របស់ភិក្ខុ ហ្វា ហៀន (៩៩២១-១០០១) ៖ហើយ '' ឡេវី បានតែងជាភាសាសំស្ក្រឹតមានពាក្យកាព្យ ១ មិនស្គាល់ជារបស់ហស៌ស៊ីលាទិត្យ សេចក្តីកត់ហេតុទី ១០ នៃគួកក្រុមជំនុំខាងកើត ស៊ីតែអេវ ឆ្នាំ ១៨៩៤ ភាគទី ២ ទំព័រ ១៨៩ ។

ស្ដោគ្រាម ) (១) ។

អំពីដំណើរ ហ៊ាន ត្សង់ និងយី ត្សិង (២) ហ៊ាន ត្សង់ ចេញពីស្រុកចិនទៅក្នុងឆ្នាំ ៦២៩ ដើរកាត់នគរខ្លះដែលជានគរនៅជាប់ស្រុក ១ នៅជាកណ្ដាលបឹងឥស្សិកុលនិងសមុទ្រអរ៉ល ហើយផ្សាយតាណាខត្រទៅលើស្រុកសុកដ្យាននិងកបិស ដកបលុះដល់ឆ្នេរទន្លេហិណ្ឌូស៍ លុះបានដើរទៅក្នុងតំបន់មួយធំ ៗ ក្នុងស្រុកឥណ្ឌា ហើយ ហ៊ាន ត្សង់ ក៏ចេញពីដែនមគធៈទៅកាលពីឆ្នាំ ៦៤១ ហើយទៅនគរចិន ជាង ង៉ាន (គឺស៊ីង៉ន-ហ្វូ) វិញក្នុងឆ្នាំ ៦៤៥ នៅវេលាក្រោយដែលចេញបាត់ពីស្រុកកំណត់ ១៦ ឆ្នាំ ។

លុះទៅដល់នគរវិញហើយក៏តាំងប្រែគម្ពីរព្រះពុទ្ធសាសនា ។

យី ត្សិង ជាអ្នកដំណើរដំបូង ដែលបោះបង់ផ្លូវដើរគោកចោល ដោយវេលានោះមានកើតចម្បាំងនៅស្រុកទីបេត៍ និងពួកអាក់ប់ យី ត្សិង ក៏ទៅតាមផ្លូវដើរទឹកតាមស្រុក គង់ តុង ក្នុងឆ្នាំ ៦៧១ កាត់ទៅលើស្រុកស្រីវិជ័យ (សុមាត្រា) ហើយចុះទៅតាម្រលិប្តិ ជាកន្លែងកំពង់ចតនៅមាត់ទន្លេគង្គា ហើយត្រឡប់ទៅស្រុកចិនវិញ តាមផ្លូវដដែលក្នុងឆ្នាំ ៦៩៥ ។

---

១- ឯតី ម៉ិណាយេរ ក្នុងសាពិស្តីខ្មែរ ២ (ឆ្នាំ ១៨៨៧) ទំព័រ ២៣៣ ។

២- រឿងរ៉ាវ ហ៊ាន ត្សង សេចក្ដីតែងអំពីស្រុកផ្សេង ១ នៅទិសខាងលិច ដែលស្តានិស្លាស់ស៊ីល្យាងបានប្រែ ប៉ារីស ១៨៥៧-១៨៥៨ សៀវភៅ ២ ក្បាល ហួយ លី អំពីរឿងប្រវត្តិរបស់ ហ៊ាន ត្សង និង ហ៊ាន ត្សង មានដំណើរ ទៅក្នុងស្រុកឥណ្ឌាក្នុងឆ្នាំ ៦២៩ លុះដល់ឆ្នាំ ៦៤៥ ដែលស្តានិស្លាស់ ស៊ុល្យាងប្រែ ប៉ារីសឆ្នាំ ១៨៥៣ ។

សេចក្ដីកត់សម្គាល់របស់អ្នកដំណើរទាំង ២ នាក់នេះ ដែលត្រូវថែមភ្ជាប់រឿងរ៉ាវរបស់ ហ៊ាន ត្សង់ ជាមួយផងនោះ ធ្វើឲ្យយើង បានដឹងរឿងរ៉ាវក្នុងពុទ្ធសាសនា ក្នុងស្រុកឥណ្ឌាក្នុងឆ្នាំ ៧០០ ដួនបរិបូណ៌ ។

ឃើញថាកាលក្នុងសករាជនោះព្រះពុទ្ធសាសនារៀវរេចណាស់ក្នុងតំបន់ទិសពាយព្យ នៅវេលាក្រោយដែលពួកហ៊ុន បានលុកលុយ ស្រុកគន្ធារនោះ ស្ទើរតែគ្មានអ្នកកាន់ព្រះពុទ្ធសាសនា ហើយឃើញមានតែវិហារដេរដាស ដែលគេបោះបង់ចោល ប៉ុន្តែឧទ្យានក៏នៅជាប់និងស្រុកនេះនៅឡើយ ក្នុងស្រុកឥណ្ឌាខាងត្បូង មានពួកជែនជាច្រើន ប៉ុន្តែឯស្រុក "ទ្រាវិដ្យាង" ជាកន្លែងជ្រកពួនថៃភិក្ខុ ១០.០០០ អង្គជាពួកស្ថវិរក្នុងស្រុកឥណ្ឌាកណ្ដាល និង ស្រុកបេង្គាល់នោះ ពុទ្ធសាសនានៅរុងរឿងគ្រាន់បើ ពិតមែនតែមានសាសនាហិណ្ឌូមកប្រកួត នឹងពុទ្ធសាសនា ។

ហ៊ាន ត្សង់ បានគិតបូកចំនួនភិក្ខុឃើញមាន ១៨៣.០០០ អង្គ ហើយ ៣២.០០០ ជាពួកមហាយាន ៩៦.០០០ ជាពួក ហីនយាន ឯពួកឯទៀតក្រៅពីនោះ ក៏រៀនតាមបែប ទាំង ២ នេះ ពួក ហីនយានក្នុងជាន់នោះ មានអំណាចជាង មានពួក ៣ ទៀត គឺពួកស្ថវិរ (នៅសីឡូន៍ និងបង់ហ្គាល់ខាងកើត) ពួកសព្វាស្តិវាទិន (នៅខាងជើងបំផុតពីប្រទល់ដែនទៅ) ហើយនឹងពួកសម្មិទិយ ដែលជឿថាមានបុគ្គល (បា.បុគ្គល) ប្រាកដ ។

យិ ត្សិង បានប្រមូលពួកកាន់ពុទ្ធសាសនាជា ៤ និកាយ ដែលនឹង

សម្គាល់បានដោយចំណែកវិន័យរបស់ខ្លួន គឺពួកមហាសង្ឃិក ពួកស្ថវិរ ពួកមូលសព្វាស្តិវាទិន (យ៉-ត្សីង ក៏ជាពួកវាំងនេះដែរ) ហើយខាងក្រោយបំផុត គឺពួកសម្មិទីយ ពួកមហាសង្ឃិនោះ ឃើញមានតែគ្រប់កន្លែង ប៉ុន្តែមិនឃើញមានចំនួនច្រើនក្នុងកន្លែងនីមួយ ៗ ឡើយ ពួកស្ថវិរបាន តាំងនៅក្នុងកោះស៊ីឡង់ (លង្កា) និងក្នុងតំបន់ស្រុកឥណ្ឌាខាងត្បូង ជាដំបូងពួកសព្វាស្តិវាទិន នៅក្នុងតំបន់ខាងជើងស្រុកឥណ្ឌា មានដែនមគធៈជាដើម ពួកសម្មិទិយ នៅស្រុកសិន្ធុ និង គុជរ៉ាត មានក្រុងវលភី ដែលមានព្រះវិហារ ១០០ និង ភិក្ខុ ៦.០០០ គង់ជាពួកនេះ នៅក្នុងពួកនោះ ។

ក្នុងកាលនោះសិក្ខាវិន័យ ក៏ធ្លាក់ចុះជាបាត់អំណាចដើមច្រើន ឯទម្លាប់បិណ្ឌបាតក៏បាត់អស់ទៅ អស់តាំងក្នុងបួសទទួលខ្ចីចង្ហាន់ តែនៅក្នុងតាមសេចក្តីស្នោះចំពោះ របស់ឧបាសក នៅថ្ងៃឧបោសថ អស់ទាំងភិក្ខុ បានរៀបធ្វើបុណ្យស្លូតត្រង់មានចម្រៀងនិងតន្ត្រី មានរៀបស្រាង់ព្រះពុទ្ធរូបទាំងឡាយជាដើម ព្រះវិហារទាំងឡាយក៏សុទ្ធតែប្រដាប់តាក់តែងដោយក្បាច់ចម្លាក់និងលាបថ្នាំពណ៌ ។

កន្លែងយ៉ាងធំដែលសិក្សាពុទ្ធសាសនានៅក្នុងឆ្នាំ៧០០ គឺព្រះវិហារនាលន្ទ (បារគន ចម្ងាយ ៧ មីល្យពីក្រុងរាជគ្រឹះខាងជើង) ។

ព្រះវិហារនាលន្ទនោះឱ្យឈ្មោះតាមស្រុកនៅជិតនោះ (នាលន្ទគ្រាម) ដែលបានជាហៅដូច្នេះនោះ ព្រោះយកតាមឈ្មោះនាគ ១ ដែលនៅ

ក្នុងត្រពាំងជិតវិនោះពីដើម ឬដោយព្រះពុទ្ធអង្គ កាលនៅជាពោធិសត្វ ក្នុងអតីតជាតិ ជាស្តេចសោយរាជ្យក្នុងនគរនោះ ព្រះអង្គមានព្រះរាជសទ្ធាច្រើនបេះតែទឹកក្នុងព្រះហឫទ័យថា ឲ្យមានទេះ តែមិនទាន់ល្មម ( ទ.អលំ ) ។

គេមិនបានដឹងថាក្នុងឆ្នាំណា ដែលបានសាងព្រះវិហារនោះឡើយ តែកន្លែងនោះ កាលដើមជាព្រៃស្វាយទាំងអស់ ( ប៉ារីកម្ពុជ ) តាមរឿងរ៉ាវជាពង្សាវតារថា មាននាយពាណិជ ៥០០ នាក់ បានទិញទីនោះថ្វាយព្រះពុទ្ធ ថាព្រះអង្គបានប្រថាប់នៅទីនោះជាច្រើនដង ដូចកាលមានពុទ្ធដំណើរជាន់ក្រោយបំផុត ដែលចេញពីរាជគ្រឹះបាដលិបុត្រ (១) តាមហៀន-ត្សង ថាសង្ឃារាមនោះ ស្តេចសក្រាទិត្យ ដែលគ្រងរាជ្យក្នុងដែនមគធៈបានសាងជាដំបូងនៅវេលាក្រោយពុទ្ធបរិនិព្វានបន្តិច ស្តេចដែលគ្រងរាជ្យក្រោយមក គឺពុទ្ធគុប្ត តថាគតគុប្ត ពាលាទិត្យនិងវជ្របានសាងសង្ឃារាមជាថ្មីមួយៗ ម្នាក់មានព្រះវិហារ ១ ដែលស្តេចនៅក្នុងស្រុកឥណ្ឌាកណ្តាលបានសាងជាក្រោយបន្ថែមទៅលើវិហារទាំងនេះទៀត ក្នុងជាន់នោះមានព្រះវិហារ ៦ ដែល ហៀន-ត្សង បានឃើញឯយី-ត្សីង បានឃើញវិហារ ៨ ។

កំផែងជុំវិញនៃព្រះវិហារទាំងនោះកសាងជា ៤ ជ្រុង មានកែវជុំវិញទាំង

---

១- មហាបរិនិព្វានសូត្រ ខ្សែ ១ ទំព័រ ១៥ មជ្ឈិមនិកាយខ្សែ ១ ទំព័រ ៣៥០ ទីឃនិកាយ ខ្សែ ១ ទំព័រ ២១១ ។

៤ មុខឯទ្វារដែលធំជាងគេ នៅខាងលិចមានដំបូលខ្ពង់ខ្ពស់ជាងគេ កាលណាគេចូលទៅជិតព្រះវិហារនោះ គេនឹងដើរកាត់ស្ពាន និងប្រាសាទជាច្រើន លុះចូលផុតទ្វារទៅ គេនឹងឃើញក្នុងកំផែងយ៉ាងធំ ជុំវិញដែលមានរៀបរៀងពីទិសឦសានទៅទិសនិរតី ទូសង្ឃារាមធំ ៗ ដែលមានកុដិ ៣ ជាន់ សាងពីឥដ្ឋរៀបរៀងជុំវិញខ្លាក់កណ្តាលវិហារទាំងនេះ គឺដោយបន្ទប់ជួរ ៗ ដែលបោះលកន្ទុំកញ្ចាំងក្រោយអស់ទាំងដំបូលនោះ ធ្វើកបស្នើហើយរៀបតាក់តែងទៅដោយរូបក្បាលមនុស្ស ទំហំប៉ុនក្បាលមនុស្សមែន ៗ ឯទ្វារនោះមានស្លាបពៃ ១ ដើម្បីឲ្យបានមើលធ្លុះទៅខាងក្នុងជាដាច់ ក្នុង ១ បំពៀង ៗ មានវិហារនោះ ៩ ហើយទាំង ៤ បំពៀងមានវិហារ ៣៦ ក្នុងវិហារមួយ ៗ មានទំហំផែនទី ៣ម ៣០ ប្អូនជ្រុង ៗ ម្យ៉ាងវិញទៀត នៅជ្រុងនីមួយ ៗ ទាំង ៤ ជ្រុងនោះមានធ្វើជាប៉មភ្ញាក់ព្លួសម្រាប់គង្វាលដែលមានបណ្តាស័ក្តិធំជាងគេ ទ្វារដែលចូលទៅក្នុងសង្ឃារាមមួយ ៗ នេះ នៅទិសខាងលិចទាំងអស់ដូចជាទ្វារកំផែងធំនោះ ដែលនៅមុខទ្វារនីមួយ ៗ នោះ មានប្រាសាទរូបព្រះ ១ ៗ

ពាក្យគាប់ដែល ហ៊ានត្សង សាសូត្រពីបែបយ៉ាងព្រះវិហារទាំងនេះ បានជាតាំងចាំគាត់បានពិនិត្យមើលដោយច្បាស់ណាស់ (វ. ទំព័រ ១៥០-១៥១) ពាក្យដែលគាត់តែងនោះ ជាសេចក្តីថាដូច្នេះ ៖

អស់ទាំងប្រាសាទយ៉ាងល្អ បានរៀបរៀងជាជួរត្រឹមត្រូវអស់ទាំងប៉ម ដែលបែនឡើងទៅដោយផ្កាថ្មនោះ លើកខ្ពស់ឡើងដូចជាកំពូលគ្រឹង្គ ដែល

រថនាដ៏វិចិត្រនោះនើបឡើងកណ្តាលអាកាសវេហាស៍ ហើយអស់តាំងដំបូលប្រាសាទ ហាក់ដូចជាហើរឡើងទៅលើស្រទាប់មេឃ នៅចន្លោះតាំងឡាយ គេឃើញកើតនៅខ្យល់និងពពក ' នៅជុំវិញប្រាសាទទាំងនេះ ព្រះអាទិត្យនិងព្រះចន្ទចូលជួបគ្នា នៅជុំវិញប្រាសាទទាំងនេះ មានទឹកដ៏ថ្លាជ្រះពណ៌ក្រមៅ ហើយមានដើមឈូកខៀវលូតលាស់ មានស្រទាប់គ្របករីកពេយពាយ ហើយដេរដាសទៅដោយដើមកណ្តក ដែលមានផ្កាព្យួរយោរយាន និងដើមពណិក្រហមថ្លា មានដើមស្វាយជាច្រើន ដាំព័ទ្ធពីក្រៅប្រកបដោយម្លប់ត្រឈៃ ។

ក្នុងទីផ្សេងៗ មានកុដិលោកសង្ឃទីមួយ ១ សុទ្ធតែមាន ៤ ជាន់ អស់ទាំងប៉មនោះ មានសសររចនាទៅដោយរូបនាគ និង ផែកព័ទ្ធជាក្បាច់មានពណ៌ដូចជាត់ខ្ទុ អស់ទាំងក្លោងសិងផ្ទាត់ទៅដោយ ក្បាច់ផ្សេងៗ ហើយឯសសរសិងរចនាទេះដោយថ្មមថ្មលាបពណ៌ក្រហម បង្គំក្បាច់យ៉ាងល្អ ហើយឯធ្នឿងកាត់ដាប់ៗ ពីធ្នា អស់ក៏ដំបេក្ខាខាងលើនោះសិងតែរចនាដោយក្បាច់ចម្លាក់ ដំបូលសុទ្ធតែប្រក់ក្បឿងយ៉ាងថ្មី ហើយទាំងនៅដោយពន្លឺពេលរះស៊ើកុនិ ១ ស្របក់ ១ ពាន់យ៉ាង ។

នៅខាងក្នុង និង ខាងក្រៅកំផែងនេះ មានសាងស្ទូប ប្រាសាទធំក្មុហានៅក្បែរនោះ គេសង្កេតឃើញមានរូបនិងប្រាសាទ តាលើកតែស្ទួរ ១ កំពស់ ៩៩ ម៉ែត្រ ដែលពេលាទិត្យ បានសាងយកតាមរំប្រាសាទនៅពោធិឧយា មុនអារទីនិក រូបដូចគ្នាដែរ ប្រាសាទស្ពាន់ ១

ដែលហៅថាបាទសាន់ វេលាដែលហាន-ត្សង់ មានដំណើរទៅក្នុងទីនោះ មានដើម "ឈើចាក់ធ្មេញ" ដែលដុះពីឈើចាក់ធ្មេញ (ឈើស្ងួន) ដែលព្រះសម្ពុទ្ធបានបោះ មានបល្ល័ង្កព្រះពុទ្ធ ៤ អង្គ ដែលកន្ទន់មក មានព្រះពុទ្ធរូបសាងពីថ្មដែលកំពស់ ២៦ ម៉ែត្រ ដែលបូណាមែនបានសាង (ឆ្នាំ ៧០០) ។ល។

ចំនួនអ្នកបួសដែលនៅជាប់ជានិច្ចនោះ ៣.៥០០ បើបូកចំនួនអ្នកបួសបំណួលដែលចូលទៅនៅផង ត្រូវជា ១០.០០០ ព្រះវិហារនោះ មានដើមស្លូចំនួន ២០០ ភូមិ ហើយអស់ទាំងអ្នកស្រុកយកបង្អាន់ចូលទៅប្រគេនជារាល់ថ្ងៃ ។

ពួកភិក្ខុដែលមានងារ (វិហារស្វាមិន៍) តាំងគារក្រុមជំនុំកាន់កាប់ ហើយពួកក្រុមជំនុំនោះ គឺពួកស្ថវិរ ដែលជាភិក្ខុមានអាយុច្រើនជាងគេ ពួកវិហារបាល ដែលមានកិច្ចត្រូវប្រមូលប្រជុំនៃក្រុមជំនុំនិងយាំទ្វារ គឺត្រូវបិទទ្វារគន្លឹសទ្វារពេលល្ងាច និងទុកដាក់ត្រានៃពួកស្ថវិរ ពួកកម្មទាន មានកិច្ចត្រូវរៀបគង់និងត្រួតត្រាពេលនាទី ។

ហាន ត្សង់ វេលាដែលទៅដល់បាននៅក្នុងសំណាកមដែលស្តេចពលាទិត្យសាង ជាជំនូនគាត់បាននៅក្នុងពុទ្ធកុដិ ១ បំណែក រួចពីនោះបានដាច់មកនៅតែម្នាក់ឯង វិហារ ១ យ៉ាងល្អរាល់តែថ្ងៃ គេបានឲ្យមកគាត់ គឺផ្លែជម្ពូក្រហម ១០០ ស្លាចំពុល ២០ ផ្លែ អន្សៀ ២០ កាប៊ូរ ១ ដំឡូង បាយ ១ ស្ពក ហើយនិងទឹកដោះស្រស់ (ទឹក) និង

ទឹកដោះថ្លា (សប្បិ) ចំនួនជួនល្មមក្នុង ១ ខែ ។ គាត់បានទទួលប្រេង ៣ ដំឡឹង មានស្រមណ៍ ១ អង្គ និង ព្រាហ្មណ៍ជូនគាត់ដើរលេងដោយជិះដំរី ដោយរទេះទឹមគ្រឹងស្នែងជាកល់ថ្ងៃ ។

តាំងពីឆ្នាំ ៦០០ មក នាលន្ទជាទីប្រជុំធំ ១ រាល់ថ្ងៃគេបង្ហាត់បង្រៀនប្រហែល ១០០ យ៉ាង មិនត្រឹមតែបែបធម៌អាថ៌ក្នុងពុទ្ធសាសនាឡើយ គឺមានបង្រៀនអំពីវិធីគិតគូរសេចក្ដីដែលប្រកបដោយហេតុ ( ហេតុវិទ្យា ) ( បា . ហេតុវិជ្ជា) អំពីពង្សាវតារ និងរបៀបខ្ទរភាសា (សទ្ទវិទ្យា) (បា. សទ្ទវិជ្ជា) អំពីវិជ្ជាពេទ្យ (ចិកិត្សាវិទ្យា) (បា.តិកិច្ឆាវិជ្ជា) អំពីវិជ្ជាស្ទាត់កំបាំង (ក្រិយា) អំពីក្បួនខទ្ទន(សំខ្យាន) ហើយនិងរបៀបផ្សេងៗទៀតផង ក្នុងពួកកាន់ពុទ្ធសាសនាទាំង ១៨ ពួកនេះ គេរើសបញ្ចូលតែពួក ហីនយាន និង ពួកមហាយានក្នុងសាលានោះ ដែលនឹងបានទៅក្នុងសាលានាលន្ទនោះសុទ្ធតែបានចិប្រឡងហើយ ដោយសេចក្ដីពិនិត្យពិច័យប្រិតយ៉ាងតឹងតែង តាមធម្មតា គេឲ្យជាប់តែ ២ ឬ ៣ នាក់ក្នុងចំនួនបេក្ខជនប្រឡង ១០ នាក់ ហើយពួកលោកសង្ឃក្នុងនាលន្ទនោះ គេកោតណាស់ ពួកភិក្ខុក្នុងវត្តនេះ មិនមែនប្រឹងរៀនតែត្រឹមដោយចេះវិជ្ជាចេះដឹងទេ គឺប្រឹងរៀនដោយកាន់ត្រឹមត្រូវផង ។

ឯក្រិត្យវិន័យនោះ តឹងតែងណាស់ ហើយសេចក្ដីដែលមិនកាន់តាម នាំឲ្យបណ្ដេញខ្លួនចេញអំពីពួកនោះ ។

ក្នុងកាលដែល ហ៊ិន ត្សង នៅ ៗ ទីនោះ ៗ លោកដែលដំណាងគេ

ក្នុងវគ្គនោះព្រះនាមថាសីលភទ្រមានអាយុ ១០៦ ឆ្នាំ ដោយព្រះជន្មច្រើន និងដោយចេះវិជ្ជាដ៏ជ្រៅជ្រះនោះ ក៏បានជាធំលើសគេទាំងអស់ ដោយគេកោតខ្លាចហើយគេមិនហ៊ានហៅចំឈ្មោះឡើយ គេហៅថាអ្នកឃ្លាំងធម៌វិញ "សទ្ធបិកោស" ហ៊ានត្សង បានរៀននូវយោគសាស្ត្រ ពីព្រះថេរៈនេះ មុនដែល ហ៊ានត្សង ទៅដល់បន្តិចនោះ សីលភទ្រមានជម្ងឺឈឺក្អកជាខ្លាំង ហើយចង់អត់អាហារឲ្យស្លាប់ ប៉ុន្តែបញ្ចស្រី អវលោកិតេស្វរ និង មៃត្រេយ មកពន្យល់សុបិនឲ្យឃើញរូបហើយទូន្មានឲ្យខំអត់ទ្រាំហើយប្រាប់ថា ជម្ងឺនោះច្បាស់ជានឹងជាស្បើយមិនខាន ឲ្យតែខំយកចិត្តទុកដាក់បង្រៀនធម៌អាថ៌ចុះ មានបង្រៀនអ្នកបួសជាតិចិន ដែលនឹងមកដល់ជាដើម ហើយក្រោយនោះ ក៏ឃើញពិតដូចទំនាយប្រាកដមែន ។

សីលភទ្រនេះជាត្រកូលស្តេចនៅសមតដ ដោយចង់សិក្សាវិជ្ជាខ្លាំងណាស់ ក៏ចូលមកទទួលការរៀនសូត្រអំពីធម្មបាល នៅទីនាលន្ទ ឯធម្មបាលនោះ ក៏ស្លាប់មុនទៅជាយូរអង្វែងហើយ សីលភទ្រ ក៏នៅជំនួសគ្រូនោះឡើង ហើយបានដោះអាថ៌ប្រស្នា និង ព្រាហ្មណ៍ម្នាក់ មកពីស្រុកត់ណ្ណាខាងត្បូង បានឈ្នះព្រាហ្មណ៍នោះគ្រប់អាថ៌ប្រស្នាទាំងអស់ ឯមហាក្សត្រិយ៍ ក៏បានឲ្យរង្វាន់ ដោយប្រគេនក្រុង ១ នៅលើកំពង់ខាងទិសឦសាននៃក្រុងគយា ហើយសីលភទ្រក៏បានសាងជាព្រះវិហារ ១ នៅទីនោះ ។

ធម្មបាលកើតនៅកញ្ចីបុរ ហើយបានចូលទៅនៅក្នុងមជ្ឈិមប្រទេស

បានរៀនបិដកទាំង ៣ ក្នុងសំណាក់ ទិន្នាគ ហើយតពីនោះមកបាន ទៅនៅក្នុងពោធិគយា ហើយបានបង្ហាត់បង្រៀនក្នុងទីនោះជាង ៣០ ឆ្នាំ នៅទីនោះហើយដែលធម្មបាលបានទទួលការ ១ ពីការិវេក ដែលជាអ្នកបង្ហាត់បង្រៀនធម៌របស់ទាគាជិន ធម្មបាលបានតំណាង ចន្ទ្រ កីរតិ ជាអ្នកប្រាជ្ញ ១ នៅនាលន្ទ នៅទីនោះហើយដែល បានទទួលហើយ បានបង្រៀនសីលភទ្រ លុះជិតនឹងអស់អាយុ ក៏បានទៅសុវណ្ណទ្វីប (សុមាត្រា) ហើយក៏ស្លាប់ទៅនៅទីនោះ ។

បើយើងនឹងរៀបថាធម្មបាល កើតមុនសីលភទ្រជាសិស្ស ១០ ឆ្នាំ នោះគឺកើតក្នុងឆ្នាំ ៥១៧ ហើយដែលបានចាប់បង្រៀនបង្ហាត់ក្នុងឆ្នាំ ៥៤០ ទៅនៅៗគយា ៣០ ឆ្នាំ លុះដល់ឆ្នាំ ៥៧០ ហើយទៅនៅ ៗ នាលន្ទ ២០ ឆ្នាំ ទើបចូលទៅសុមាត្រា (គឺ ស្រីវិជ័យ) ក្នុងឆ្នាំ ៥៩០ ហើយក៏ទទួលមរណភាពនៅក្នុងឆ្នាំ ៥៩៥ ។

ក្នុងពួកអាចារ្យទាំងប៉ុន្មាន ដែលបង្ហាត់បង្រៀននៅនាលន្ទក្នុងកាល ដែលហ៊ាន-ត្សង់នៅនោះ នោះត្រូវរាប់បញ្ចូលអាចារ្យឈ្មោះគុណមតិ និងស្ថិរមតិផង ឯគុណមតិបានអាស្រ័យនៅៗវលភី និងនាលន្ទ ដោយលំដាប់ហើយបានជាគ្រូនៃវសុមិត្រ ក៏សិស្សនិងគ្រូទាំង ២ នេះ បានតែងសេចក្តីអធិប្បាយនៃគម្ពីរអភិធម្មកោសស ដែល វសុ.ពន្ធុ បានតែង ស្ថិរមតិ ក្នុងកន្លែង ៦ ដែលគុណមតិ នៅហើយបានតែងសេចក្តីអធិប្បាយនៃគម្ពីរដែល វសុ.ពន្ធុធ្វើនោះដែរ ។

ក្រោយបំផុតនេះមាននៅអ្នកប្រាជ្ញ ១ ក្នុងព្រះវិហារនេះ គឺចន្ទ្រគោមិនដែលជាអ្នកតែងនូវវេយ្យាករណ៍ និងតែងគម្ពីរដែលជាគាថាសុទ្ធ ចន្ទ្រគោមិននេះ រស់នៅក្នុងវេងពីឆ្នាំ ៦២៥ ទៅដល់ឆ្នាំ៦៧៣ ក្នុងសម័យដែលយី-ត្សីងមានដំណើរទៅក្នុងនគរនោះ អ្នកប្រាជ្ញនេះបានតែង នូវវេយ្យាករណ៍គឺចន្ទ្រវ្យាករណ៍ (អ្នកតែងឈ្មោះលាបិនឆ្នាំ១៩០២) និងគម្ពីរតូចដែលជាគាថាសុទ្ធក្នុងរឿងពុទ្ធសាសនា ១ គឺសិស្សលេខធម៌កាវ្យ (អ្នកតែងឈ្មោះម៉ាណាយេវិសាពិស្តីខ្សែ) ។

នៅខាងលិចនាលន្ទមានវត្ត ១ ទៀតឈ្មោះ គិលាវេក ដែលថ្កុំថ្កើងក្នុងកាលនៃ យី ត្សីង ជាអ្នកប្រាជ្ញឈ្មោះ គុណចន្ទ្រ ។

អ្នកប្រាជ្ញក្នុងពុទ្ធសាសនាពីឆ្នាំ ១០០ ទៅដល់ឆ្នាំ ៧០០ ៖

ឆ្នាំ ១០០ : អស្វឃោស វសុមិត្រទី ១

ឆ្នាំ ២០០ : ដល់ឆ្នាំ ៣០០ { នាគាជុន-អារ្យទេវ<br>ធម៌ត្រាត

ឆ្នាំ ៤០០ : { វសុពន្ធុ-អសង្គ-សំឃភទ្រ-ហរិវម៌ន (២៨០-៣៦០)<br>សារមតិ-ពុទ្ធសិម្ហ-វិមលមិត្រ (៣៦០-៤០)

ឆ្នាំ ៥០០ : ទិន្នាគ-វសុមិត្រទី ២

ឆ្នាំ ៦០០ :
- ធម្មបាល ស្ថិរមតិ គុណមតិ
- (៥១០-៥៩៥) (៥២០-៥៦០) (៥២០-៥៦០)
- សីភទ្រ
- (៥២៧-៦៣៥) ជយសេន ប្រាជ្ញគុប្ត វសុមិត្រទី ៣
- (៥៣៣-៦៣៥)
- ភទ្រុចិ-ភាវវិវេក (តាំងពីឆ្នាំ ៥៥០ មក)

ឆ្នាំ ៧០០ : ចន្ទ្រគោមិន៍ (ឆ្នាំ ៦២៥ ដល់ឆ្នាំ ៦៧៣) ។

ចន្ទ្រកីរតិ

X

X X

# បរិច្ឆេទទី ៨

## អំពីសេចក្ដីវិនាស ពុទ្ធសាសនាក្នុងស្រុកឥណ្ឌា

អំពីសេចក្ដីវិនាសពុទ្ធសាសនាក្នុងស្រុកឥណ្ឌា ។

សេចក្ដីវិនាសព្រះពុទ្ធសាសនា ចាប់ដើមអំពីឆ្នាំ ៧០០ ហើយវិនាសយ៉ាងធាប់តាំងពីឆ្នាំ ៨០០ តទៅ ហើយចេះតែបាត់បង់តទៅទៀត ។

សេចក្ដីវិនាសនេះ មានហេតុ ២ យ៉ាង គឺហេតុខាងក្នុង និង ហេតុខាងក្រៅ ។

## ១- អំពីហេតុខាងក្នុងនៃសេចក្ដីវិនាសព្រះពុទ្ធសាសនា

ហេតុយ៉ាងធំដែលនាំឲ្យវិនាសព្រះពុទ្ធសាសនានោះ មកអំពីសេចក្ដីបង្កើតនូវវិធីហួសខ្នាតនិងមន្តអាគមផ្សេងៗ របស់ពួកមហាយាន ឯកិរិយាប្រើនូវវិធីដេញខ្មោចនិងប្រើឈាននោះ មិនខុសឆ្ងាយពីបែបសាសនាចាស់ឡើយ ប៉ុន្តែកាន់យកនូវផ្លូវបង្វៀតពេក ហើយធ្វើបេះតែហួស តមកទៀតក្នុងឆ្នាំខាងក្រោយនេះ ។

ក្នុងឆ្នាំ ៧០០ គេបានពិនិត្យឃើញមានប្រើបែបធរណី ឯវិធីនោះកើតមានឡើងជាបែបយ៉ាងនៅក្នុងឆ្នាំ ៦៥០ ដែលបានឲ្យឈ្មោះថា តន្ត្រយាន គឺទេះថ្មី ១ សម្រាប់ទៅកាន់ស្ថាននិព្វាន ។

ឯតន្ត្រនេះ ជា "សៀវភៅ ១" ដែលពន្យល់អំពីវិធីពិតប្រាកដ (បរមត្ថ) និងរបៀបបុណ្យ ដែលអាចនឹងនាំទៅនិព្វាន ឬទៅជួបនឹងចិត្តដ៏ឧត្តម មានតន្ត្រ ខាងសាសនាព្រះឥសូរ ព្រះនារាយណ៍ និងខាងពុទ្ធសាសនា តន្ត្រទាំងនេះ បង្រៀនបែបដែលគន្លងបម្រើនារីយកនូវពោធិសត្វ ហើយធ្វើខ្លួនឲ្យបានជាពោធិសត្វ នោះលោកដែលបានទទួលអភិសេកហើយ ។

ខាងសាសនាឥណ្ឌូ គេផ្ដើមកិរិយា ១ ឬអំណាចគុណធាប់ ១ (សក្តិ) អំណាចធ្វើជាកិរិយា នៃទេវតា ៗ ឧបមាដូចជាបារមី ជាសក្តិរបស់ព្រះឥសូរ លក្ស្មីជាសក្តិរបស់ព្រះវិស្ណុ ឯពុទ្ធសាសនាដែលក្លាយទៅនោះ បានទទួលបែបខុសនេះយកមក ហើយគេឃើញថាពោធិសត្វខ្លះ និងព្រះពុទ្ធខ្លះ មានសក្តិដូចជាព្រះអវលោកេតិស្វរ និងនាងតារា គេយល់ថាការជួប

ផ្គុំសក្តិ និង ព្រះពោធិសត្វ ឬ និង ព្រះពុទ្ធនោះ ជាហេតុដើម្បីនឹងឲ្យបាន នូវសេចក្តីសុខសួស្តីដ៏ឧត្តម ហេតុនេះបានជាគេចែកនូវកាយទី ៤ ថា មហាសុខកាយ ឬ វជ្រកាយ ។

ប៉ុន្តែបើអ្នកបេះបែបនេះធ្វើខ្លួនឲ្យដូចជាព្រះពុទ្ធ ១អង្គ ឬពោធិសត្វ ១ អង្គ ហើយអ្នកនោះឯងក៏អាចនឹងបានដល់ទីបរមសុខ ដោយអំណាចនៃ ការរួបរួម និងសក្តិរបស់ខ្លួន ដោយហេតុនេះហើយទើបមានបង្កើតបែបមៃ-ថុន បញ្ចូលទៅក្នុងសេចក្តីគោរពប្រតិបត្តិ គេបំពេញថែមទៅលើវិធីនេះ ទៀតថា ដែលធ្វើខ្លួនឲ្យដូចជាព្រះពុទ្ធ ដោយដាច់ខាតដូច្នេះហើយនោះ មិនអាចនឹងប្រឡាក់ទៅដោយអំពើអ្វីមួយឡើយ គឺនឹងប្រព្រឹត្តនូវអំពើ ឧក្រិដ្ឋយ៉ាងធំៗបានឥតមានទោសអ្វី ។

បរស្សហរណំ កាយំ បរទារកំ សេវនំ

វត្តវំ ចាគ្គំ ចិត្តំ សព្វពុទ្ធាមិស្សយោតយេតិ (១)

ហ៊ិន-ត្សង់និង យីត្សិង គ្មាននិយាយអំពីសេចក្តីនោះទាំងនេះ ឡើយ ប៉ុន្តែក្នុងឆ្នាំ ៧៤៧ មានអ្នកប្រាជ្ញខាងតន្ត្រ ឈ្មោះ បទ្មសម្ភវ ដែលបានទៅៗ គយានិងនាលន្ទ បានទៅដល់ទីបេត៍ ហើយលុះដល់មក ក្នុងឆ្នាំ ៨០០ ស្រាប់តែឃើញមានសេចក្តីប្រែជាភាសាចិនអំពីតន្ត្រ គឺ ក្នុងឆ្នាំ ៧៥០ ដែលត្រូវទុកដាក់នូវកំណើត តន្ត្រនេះ ប្រហែលជា កន្លែងដែលកើតជាដំបូង គឺឧទ្យាន " ស្វាត " និង កស្មិរ ប៉ុន្តែឃើញ

---

១- សុភាសិតសង្គ្រហ អ្នកតែង ឈ្មោះ បិនឌីល ខ្សែ២ ទំព័រ ៤១ ។

បានប្រៀនដេរដោសនៅក្នុងក្រុង បេង្គាល ពីវីនោះហើយដែលបានទៅដល់ នេប៉ាល់ និង ទីបេត៍ នៅក្នុងទីបង្រៀនបាស់ទៃ នាលន្ទ និង បង្រៀនថ្មីនៅវិក្រមសីលានោះ អស់ទាំងគ្រូសុទ្ធតែពួកអ្នកបេះមន្តអាគម (សិទ្ធ) ។

វិធីសិក្សាផ្លូវតន្ត្រនោះមាន ៤ យ៉ាងគឺគ្រិយា (របៀបបុណ្យដែលធ្វើតាមទំនៀម) ចរ្យា ( មារយាទ ) យោគ សេចក្ដីសម្លឹងពិចារណាដោយមុតមាំ ) និងអនុត្តរយោគ ថ្នាក់ដ៏ប្រសើរនៃយោគ ក្នុងឆ្នាំ ៩៦៥ ឃើញមានក្នុងរូបគាស៊ីកណ្ដាលបែបកាលចក្រតន្ត្រ ដែលបង្កើតផ្លូវប្រ-តិបត្តិនូវព្រះពុទ្ធជាបែបបន់ស្រន់ គឺកាលាចក្រ និង ហេតុក ជារូបនៃអាទិពុទ្ធ វិធីនេះនាំឲ្យវិនាសព្រះពុទ្ធសាសនា ពិតមែនតែគ្មានប្រាជ្ញាទីងធ្វើឲ្យវិនាស ហើយពិតមែនតែពួក ហ៊ិន យាន នៅមានវិន័យយ៉ាងមាំមួន ដែលបានកាន់តាមនៅស្រុកបេង្គាល់ ដរាបដល់ឆ្នាំ ១១០០ ។

## ២- អំពីហេតុខាងក្រៅ

សេចក្ដីលុកលុយរបស់ ពួក ម៊ិន នាំឲ្យវិនាសពុទ្ធសាសនាក្នុងស្រុកបញ្ជូបខានព្រះវិហារទៅច្រើន ដែលបោះបង់ចោល ហើយដែលបាននិយាយក្នុងបារីតរបស់អ្នកដំណើរ ក្នុងឆ្នាំ ៧០០ គឺនៅមានតែក្នុងស្រុកឧទ្យានប៉ុណ្ណោះ ដែលបណ្ដាអ្នកស្រុកនៅកោតខ្លួន គោរពប្រតិបត្តិព្រះពុទ្ធសាសនា ហើយតពីនោះមក ក៏ពួកមហាយាន ញាំញីអស់ទៅទៀត ។

នៅស្រុកកស្មីរ ព្រះពុទ្ធសាសនាវិនាសទៅដោយពួកហិណ្ឌូ កាលក្នុងឆ្នាំ ៦០០ អ្នកបួសសុទ្ធតែមានប្រពន្ធទាំងអស់គ្នា តពីកល្ប លលិតា

អាទិត្យមក (៧៣៣-៧៦៩) អស់ទាំងក្សត្រិយ៍គ្រងរាជ្យតំណសុទ្ធតែជាអ្នកកាន់សាសនាព្រះឥស្សូរទាំងអស់ ។

ស្រុកសិន្ធនោះ ពួកអារ៉ាប់វាយយកបានក្នុងឆ្នាំ ៧១២ ។

ក្នុងស្រុកទាំងឡាយដែលនៅលើត្រើយសមុទ្រខាងលិច គឺស្រុកគុជរ៉ាថ មហារាស្ត្រ កុង្កាន នោះពួកសម្មតិយជុំថ្កើងរុងរឿង ក្នុងឆ្នាំ ៧០០ ព្រះពុទ្ធសាសនាស្ថិតនៅក្នុងទីទាំងនោះ លុះដល់ឆ្នាំ ១.២០០ ។

ក្នុងតំបន់ខាងត្បូង មានព្រះវិហារប្រាសាទធំ ៗ ដូចមានព្រះវិហារនៅអមរាវតី (ឆ្នាំ ១៥០) និងអជណ្តា (១០០ ឆ្នាំមុនគ្រិស្តសករាជមកដល់ ៦០០ ឆ្នាំ ក្រោយគ្រិស្តសករាជ) បញ្ជាក់ឲ្យឃើញស្រាប់ ប៉ុន្តែព្រះពុទ្ធសាសនាក្នុងទីនោះ ជាប់តយុទ្ធនឹងខ្មាំងយ៉ាងពីរ គឺសាសនាហិណ្ឌូ និងសាសនាជេន ហើយអន្តរាយអស់រលីងក្នុងឆ្នាំ ១១៥០ ។

ការាជ ជាក្រុងចាស់របស់កាសី (នៅលើទន្លេគង្គា ខាងលើបត្នា) ដល់ក្នុងឆ្នាំ ៨០០ បានទៅជាទីក្រុងពួកព្រាហ្មណ៍វិញ ព្រះពុទ្ធសាសនាបានស្ថិតស្ថេរនៅជាយូរអង្វែង ក្នុងតំបន់ស្រុកវណ្ណា ខាងទិសឦសាន (ពេង្គាល់ ឧរិស្សា នេប៉ាល់) ដោយសេចក្តីឧបត្ថម្ភ នៃពួកក្សត្រដែលជារាជវង្សបាល នៅទីក្រុងដែលគោបាល បានកសាងក្នុងឆ្នាំ ៧៣០ ពួកនេះ នៅតទៅបាន ៤៥០ ឆ្នាំ ហើយសេចក្តីគោរពក្នុងព្រះពុទ្ធសាសនា របស់ពួកក្សត្រទាំងនេះ ពុំមានប្រែប្រួលឡើយ ហើយបំពាក់ទង់សាសនាហិណ្ឌូវិញ ក៏ពុំធ្វើទុក្ខធ្វើបាបអ្វីឡើយ បណ្តាយឲ្យនៅជាសុខតទៅ

ទៀត គោបាល បានសាងព្រះវិហារឧទន្តបុរី ឯធម្មបាល (ឆ្នាំ ៨០០) បានសាងវិក្រមសីលាជាជំនួសនាលន្ទ ដើម្បីធ្វើជាទីបង្ហាត់បង្រៀនខាងផ្លូវសាសនា(១) ក្នុងរាជ្យមហីបាល: (៩៧៨-១០៣០) ពួកអ្នកបួសទាំងឡាយនៅស្រុកបេង្គាល បានយកពុទ្ធសាសនាទៅផ្សាយនៅស្រុកទីបេត៍ ដោយព្រះពុទ្ធសាសនានៅស្រុកនេះអន្តរាយខូចខាតទៅ ដោយសេចក្ដីឃុកឃុយក្នុងឆ្នាំ ១.០០០ អ្នកផ្សាយសាសនាដែលល្បីជាងគេក្នុងឆ្នាំ ១.១០០ នោះ គឺទីបង្ករអតីស ដែលកើតក្នុងឆ្នាំ ៩៨០ ហើយនៅវេលាដែលបានចូលបួសក្នុងពុទ្ធសាសនា នៅក្នុងឆ្នាំ ១.០១១ ហើយក៏ទៅឯសុវណ្ណទ្វីប (ស្រីវិជ័យ សុមាត្រា-) ហើយបានរៀនវិជ្ជាអំពីបណ្ឌិតជាអ្នកប្រាជ្ញធំនៅក្នុងវិហារនោះអស់ ១២ ឆ្នាំ លុះត្រឡប់មកស្រុកបេង្គាលវិញ ក៏បានធ្វើជាចៅអធិការនៅក្នុងវត្តវិក្រមសីលា លុះស្ដេចស្រុកទីបេត៍ អារាធនានិមន្តទៅ ព្រះថេរៈនេះ ក៏និមន្តទៅក្នុងឆ្នាំ ១.០៤០ ហើយបានរៀបចំពុទ្ធសាសនា ក្នុងទីនោះដែលវិនាសទៅដោយពួកកាន់បែបតន្ត្រ ឲ្យបានជាត្រឹមត្រូវល្អវិញ ខាងរបស់ពួកមហាយាន ព្រះថេរៈនេះ ក៏ដល់ទីមរណភាពទៅនៅទីនោះ ក្រោយដែលនៅបាន ១៣ ឆ្នាំ គឺក្នុងឆ្នាំ ១.០៥៣ ។

លុះមកក្នុងឆ្នាំ ១០៦៩ វង្សស្ដេចសេន ដណ្ដើមយក បានស្រុកបេង្គាល ខាងកើតពីវង្សស្ដេចបាលទៅ ហេតុនេះហើយទើបនាំឲ្យចម្រើន

---

១- ឧទន្តបុរី ឬ ឧទន្តបុរ នៅប្រូបក្រុង ពិហារសព្វថ្ងៃ (ទៅជាភ្លៀសានក្រុងគយា) វិក្រមសីលានៅ ៩ បថយិត៍ លើស្ទឹងខាងស្ដាំទន្លេគង្គា ជាខាងក្រោមភគល្បូរ ។

ព្រះពុទ្ធសាសនាមិនបាន ប៉ុន្តែសាលារៀនវិធីសាសនាធំ ៗ នៅវាឡើយទេ ដែលថានាលន្ទ បាត់ឈ្មោះនោះ ដោយវិក្រមសីលា ដែលសាងថ្មីក្នុងឆ្នាំ ៨០០នោះ មិនមែនបាត់ឈ្មោះដោយហេតុដូច្នោះទេ ព្រោះអ្នកដំណើរជាតិចិនឈ្មោះ គឺ យ៉េ (៩៦៤-៩៧៦)(១) បានអធិប្បាយអំពីសាសនានេះដែរ ព្រះវិហារទាំង ២ នេះ មានស្ពានមេត្រីនឹងគ្នាទៅវិញទៅមក ក្នុងកាលនៃអតីស (១.០៤០) ការនាថ (កាតទី ៣៩) អធិប្បាយថាកាលក្នុងរាជ្យរាមបាល នៅមានអ្នកបួសជាអ្នកប្រាជ្ញជាច្រើន នៅក្នុងវត្តវិក្រមសីលា ពោធិគយា និងឧទន្តបុរ វត្តទី ១ នោះល្បីជាងគេ គឺក្នុងជាន់នោះ គេបានបង្រៀននូវវេយ្យាករណ៍ ហេតុវិទ្យា និងតន្ត្រៈ សេចក្តីដែលបង្ហាត់បង្រៀននោះ មានរបៀបប្រហែល នឹងនៅនាលន្ទដែរ ។

ពួកវត្តបណ្តាក្រស្តមួយអន្ទើនឹងវត្តសាភម ក៏ខូចខ្ចាំទៅដោយសេចក្តីលុកលុយរបស់ពួកមហាម៉ាត់ពីឆ្នាំ ១១៩៩ បណ្តាអ្នកស្រុក ១ ចំណែករត់ទៅតាំងលំនៅក្នុងទីឯទៀត ហើយខ្លះក៏ចូលសាសនាមហាមេត់ទៅ (មហាម៉ាត់) ។

ព្រះពុទ្ធសាសនាក៏វិនាសអស់ពីស្រុកបេង្គាល់ ហើយបានតាំងទៅយូរបន្តិច នៅស្រុកឧរិស្សា និងនេប៉ាល ស្រុកនេប៉ាលនេះបានប្រែព្រះពុទ្ធសាសនា ពីស្រុកបេង្គាលដោយមាំមួន យូរបន្តិច ពិតមែនតែសាសនា

---

១- មើលរឿងនូវដែល គឺ យ៉េ ធើរ ដែលឈ្មោះ ហ៊ុយ ដែល បានតែងខ្សែ ២ ទំព័រ ២៨៦ និងរឿងនូវ គឺ យ៉េ ធើរ ដែលឈ្មោះ សារិន បានតែង ខ្សែ ៤ ទំព័រ ៣៥ ។

ហិណ្ឌូ បានតាំងជាមាំក្នុងស្រុកនោះកាលក្នុងឆ្នាំ ៧០០ លុះដល់មកក្នុងឆ្នាំ ១៣២៤ នោះពួកមុយស៊ុលម៉ង់ គឺពួកកាន់សាសនាមហាម៉ាត់ បានដេញស្ដេចស្រុកតិហ៊ិតចេញ ហើយក៏តាំងកាន់កាប់ជាម្ចាស់នគរនោះ ឯអ្នកកាន់ពុទ្ធសាសនា ក៏មាននៅជាជួរបណ្ដោយតាមពួក ហិណ្ឌូក្នុងឆ្នាំ ១៧៦៩ នោះ ពួកគួរខាំយកស្រុកនេប៉ាល់បាន ហើយសាសនាហិណ្ឌូក៏មានកម្លាំងជាថ្មីគ្របលើពុទ្ធសាសនាទៀត សព្វថ្ងៃនេះសាសនាទាំង ២ ចូលជាមួយគ្នា ហើយអ្នកកាន់សាសនាទាំង ២ នេះ គោរពប្រតិបត្តិដល់រូបជាមួយគ្នា តែបញ្ញត្តិនាមខុសគ្នា គឺ អាទិពុទ្ធ និង ស្វយម្ភូ ប្រាជ្ញាបារមិតា និងខុតិ អវលោកិតេស្វរ និងមហាកាល ។ល។ អស់ទាំងកិច្ចមានកិរិយាគ្រប់គ្នា ហើយគ្មានកាន់ក្រិត្យវិន័យអ្វីសោះ ឯគម្ពីរក្នុងពុទ្ធសាសនា ដែលចាស់ជាងគេនោះ គឺដែលគេហៅថាធម៌ទាំង ៩ (នវលោកុត្តរធម៌) ធម៌ទាំងឡាយនេះពិតល្អណាស់ តែមនុស្សសូត្ររៀនតិច ៗ

## សេចក្ដីសម្គាល់នូវសារីរិកធាតុ

តាមគម្ពីរសុមង្គលវិលាសិនី និង ដីកាផ្សេង ៗ របស់ពួកអ្នកសីហល: ថា ព្រះបាទអជាតសត្រូវ ដោយព្រះមហាកស្សបបានទូន្មាន ក៏បានប្រជុំប្រមូលនូវសារីរិកធាតុរបស់ព្រះបរមគ្រូដាក់ក្នុងស្តូបតែ ១ ក្នុងរាជអសោក កន្លែងស្តូបដែលវង្វេងបាត់ក្នុងព្រៃនោះបានជ្រាបដល់ព្រះអង្គ ហើយព្រះអង្គបានឲ្យគាស់យកព្រះសារីរិកធាតុ ក្នុងស្តូបនោះ ទៅដម្កល់ក្នុង ស្តូបទាំង ៨៤.០០០ ដែលព្រះអង្គសាង អសោកបានបញ្ជូនបុត្រទៅសីឡង់

(កោះលង្កា) ហើយបាត្រនេះ ក៏ចេះតែខ្ចាត់ខ្ចាយទៅក្នុងប្រទេសផ្សេងៗ ហ្វា ហៀន បានឃើញបាត្រនោះនៅប៉េសាវក្នុងឆ្នាំ ៤០៥ ប៉ុន្តែដល់កាលដែល ហៀន-ត្សាង ទៅ បាត្រនោះក៏បាត់ទៅ ។

តាមពង្សាវតារពួក សីហល: ថាស្តេចស្រុកកលិង្គ នៅវេលាដែលបូជាព្រះសព ព្រះសម្ពុទ្ធនោះ បានទទួលធ្មេញមួយ (ចង្កូមខាងឆ្វេង) ហើយយកទៅតម្កល់ក្នុងប្រាសាទ ដែលសាងទុកដាក់ធ្មេញនេះនៅក្រុងទន្តបុរ (បុរី) ៨០០ ឆ្នាំក្រោយនោះ ព្រះចង្កូមនេះគេបាននាំយកមកកោះលង្កា ហើយតម្កល់ទុកក្នុងប្រាសាទឈ្មោះធម្មចក្ក នៅក្រុងអនុរាធបុរី ព្រះចង្កូមនេះក៏ទៅតាមតែស្តេច នៅវេលាដែលផ្លាស់ប្តូរទីក្រុង ។

ក្នុងឆ្នាំ ១៤០០ ពួកតមិលបានយកព្រះចង្កូមនេះទៅឯតំបន់ខាងត្បូងនៃស្រុកឥណ្ឌា ប៉ុន្តែមកក្រុមពាហុទី ៣ ដណ្តើមយកបានមកវិញ ក្នុងឆ្នាំ ១៥៦០ ក្សត្រិយ៍ជាតិពតុយគេនៅគោអា យកបានស្រុកជាហ្វណា ហើយរកឃើញព្រះចង្កូមនេះនៅក្នុងស្រុកនោះ ហើយនាំយកទៅឯស្រុកគោអា ហើយវាយកំទេចផុតបោល ប៉ុន្តែល្អាងជាស្តេចស្រុកប៉េគូ (មន) ដែលបានចេញប្រាក់ជាច្រើន ដើម្បីលោះយកព្រះចង្កូមនេះ បានដំណឹងតមកពីស្តេចនៅកោដ្ត (លង្កា) ថា ស្តេចនេះមានព្រះចង្កូមដែលជាប្រាកដរើបស្តេច (មន) នេះ ចង់បានព្រះរាជបុត្រីស្តេចនោះ ធ្វើជាមហេសី ឯព្រះចង្កូមនោះក៏បានឲ្យទៅស្តេចមន និង ស្រ្តីម្នាក់ ជាបុត្រីនាហ្មឺនម្នាក់

ដែលគេក្លែងធ្វើជាបុត្រស្តេច តពីនោះមក ស្តេចស្រុកកន្ទីបានឲ្យដំណឹងទៅស្តេចស្រុក មន ថា ធ្មេញដែលស្តេចនេះបានទទួលនោះ មិនប្រាកដទេ ឯស្ត្រីនោះទៀត ក៏មិនប្រាកដដែរ ថាឯខ្លួនស្តេចស្រុកកន្ទីរ ឯងទើបមានធ្មេញប្រាកដនោះ ហើយបានថ្វាយទៅស្តេចស្រុក មន ដូរនិងព្រះរាជបុត្រដែលពិតប្រាកដ ប៉ុន្តែសេចក្តីនេះ ស្តេចស្រុក មន មិនបានទទួល ហើយធ្មេញពិត ឬដែលអាងថាពិតនោះ នៅ ៗ ស្រុក កន្ទីរ ដរាបដល់សព្វថ្ងៃនេះ ។

ចូរយើងចាំទុកថា សារីរិកធាតុខ្លះ ដែលពិតរបស់ព្រះពុទ្ធនោះ បានរកឃើញនៅស្រុកបិប្រាហ៊ និង ប៉េសាវ៉ារ ។

[ ចប់ពុទ្ធពង្សាវតារ ]

# កាយបរិភោគាទិវត្តកថា[១]

របស់ ព្រះញាណបវរវិជ្ជា ឯម អាចារ្យសាលាបាលី
ជាន់ខ្ពស់បាទតែង ប្រែចេញពីគម្ពីរបាលីទាំងឡាយ មានគម្ពីរមង្គលទីបនី
អដ្ឋកថាមង្គលសូត្រជាដើម ។

នមោ តស្ស ភគវតោ អរហតោ សម្មាសម្ពុទ្ធស្ស (៣ដង)
សត្ថិសទ្ទេហិ បូជិតំ ពុទ្ធំពុទ្ធេ នមេសិតំ
ធម្មំធម្មវរំលទ្ធំ សំឃំសំឃវរំនមេ ។

ធម្មានុសន្ធិ ព្រះសទ្ធម្មវិសេសទេសនា ទិន បានជាបុព្វាបរ លំដាប់ រៀបរៀងជាគំណែនសេចក្តីគ្នា អំពីមុនមកកាំទេ វេលានោះទឹតពណ៌នាក្នុង រតនបណាមគាថា ដែលអ្នកណាចារ្យ លោកបានចារឹកទុកក្នុងខាងដើមនៃ គម្ពីរ វដីសារដីកា ថាខ្ញុំព្រះករុណាសូមទុនកាយវាចាចិត្តថ្វាយបង្គំចំពោះ នូវអង្គសម្តេចព្រះមុនិន្ទពិទលោកនាថ ព្រះអង្គមានសេចក្តីក្តៅក្រហាយ ដោយភ្លើងកិលេស មានអវិជ្ជានិងតណ្ហាជាដើម រលត់បង់ហើយចាកកាយ សន្តាន ព្រះអង្គទ្រង់ផ្ចាញ់នូវបច្ចាមិត្តមារទាំង ៦ ឈ្មោះស្រឡះហើយព្រះ

១- អត្ថបទនេះស្រង់ពីកម្ពុជសុរិយា លេខ ៩-១០-១១-១២ ឆ្នាំ ១៩២៦-២៧ ។

អង្គបានត្រាស់សព្វញ្ញុតញ្ញាណជាព្រះពុទ្ធប្រាកដ គង់លើគេឧបល្វ័ក្ក ជាបុគ្គលគួរគឺទេវតា និង មនុស្សទាំងឡាយ ដែលមានចិត្តសន្តោសត្រេកអរក្នុងកង់កុសល គប្បីបូជា ។

ខ្ញុំព្រះករុណាសូមឱនកាយរាបចិត្តថ្វាយបង្គំចំពោះនូវព្រះនវលោកុត្តរធម៌ទាំង ៩ ចំពូក ព្រមទាំងបរិយត្តិធម៌ គឺ បិដកទាំងបី ចែកចេញជាធម្ម-ក្ខន្ធបានប្រាំបីម៉ឺនបួនពាន់ព្រះធម្មក្ខន្ធ ជាធម៌ មិនគឺ អ្នកឯណាដទៃសម្តែងតែងតាំងទុកមក ពិតជាធម៌ គឺអង្គសម្តេចព្រះលោកុត្តមាចារ្យជាម្ចាស់ព្រះអង្គបានត្រាស់ហើយ ទ្រង់សម្តែងតាំងទុកមក ជាប្រយោជន៍ដល់វេនេយ្យសត្វប្រតិបត្តិតាម និង បានរួចផុតពាកទុក្ខ ។

ខ្ញុំព្រះករុណាសូមឱនកាយរាបចិត្តថ្វាយបង្គំចំពោះនូវព្រះអរិយសង្ឃទាំង ៨ ចំពូកដែលបានត្រាស់ដឹងនូវលោកុត្តរធម៌ដ៏ប្រសើរ លោកប្រសើរជាងបុគ្គល មានក្សត្រិយ៍ និង ព្រាហ្មណ៍ជាដើម ជាស្រែបុណ្យដ៏ប្រសើរវិសេសដល់សត្វលោក ។

អធិប្បាយមកក្នុងបវរគេឧបណាមគាថា បប់សេចក្តីសង្ខេបតែប៉ុណ្ណោះដើម្បីគាពោរនូវសេចក្តីអន្តរាយគ្រប់ចំពូកដល់សាសនិកជន ដែលបានប្រតិបត្តិល្អក្នុងព្រះពុទ្ធសាសនា និង បានសេចក្តីសុខសេចក្តីចម្រើនក្នុងលោកនេះ និង លោកខាងមុខដោយផលានិសង្ស ដែលបាននមស្សការនឹករលឹកដល់ពុទ្ធគុណ ធម្មគុណ សង្ឃគុណនេះឯង ឥតោបរំដទៃអំពីបទ

ទមស្សការនេះ ទើងបានសម្ដែងអំពីសេចក្ដីប្រព្រឹត្តសំអាតនូវរបស់ផ្សេង ៗ ដែលជារបស់គួរសំអាតឲ្យស្អាតម៉ត់ចត់ល្អ និង ចម្រើនប្រយោជន៍ ក្នុងបច្ចុប្បន្ននេះ និង បរលោក ដើម្បីជាប្រយោជន៍ដល់សប្បុរសទាំងឡាយបានមើល បានស្ដាប់ហើយនិងប្រតិបត្តិតាមឲ្យបានសមគួរត្រឹមត្រូវតាមពុទ្ធោវាទ ។

សេចក្ដីប្រព្រឹត្តសំអាតនូវរបស់ផ្សេងៗនោះ សម្ដេចព្រះមហាមុនីនាថជាម្ចាស់ ព្រះអង្គទ្រង់សម្ដែងដោយន័យជាអនេកបរិយាយ មានក្នុងព្រះវិន័យខ្លះ ក្នុងព្រះសូត្រខ្លះ ក្នុងព្រះអភិធម្មខ្លះ ជាច្រើនហួសកម្លាំងព្យាយាម ហេតុនេះសូមបំព្រួញសេចក្ដីឲ្យខ្លី ចុះមកសម្ដែងចង់ឲ្យមានជាបទមាតិកា ជាការងាយនឹងសិក្សា ។

ឯបទមាតិកានោះ មាន ៦ គឺ :

១- **កាយបរិភោគវត្ត** : កិរិយាប្រព្រឹត្តសំអាតវត្ត គឺពងកាយនិងគ្រឿងបរិភោគ ។

២- ភូមិវត្ត កិរិយាប្រព្រឹត្តសំអាតវត្ត គឺផែនដី ទីលំនៅ ។

៣- សព្វកម្មន្តវត្ត កិរិយាប្រព្រឹត្តសំអាតវត្តការងារទាំងពួង ។

៤- កាយទ្វារវត្ត កិរិយាប្រព្រឹត្តសំអាតវត្តគឺកាយទ្វារ ។

៥- វចីទ្វារវត្ត កិរិយាប្រព្រឹត្តសំអាតវត្តគឺវចីទ្វារ ។

៦- មនោទ្វារវត្ត កិរិយាប្រព្រឹត្តសំអាតវត្តគឺមនោទ្វារ ។

ប្រព្រឹត្តសំអាតទូវត្ថុ គឺកាយនិងគ្រឿងបរិភោគនោះ ដូចមានបាលីក្នុងគម្ពីរព្រះវិសុទ្ធិមគ្គខ្សែ ៦ ដែលព្រះពុទ្ធឃោសាចារ្យ លោកបានដកស្រង់យកអំពីវត្ថុខន្ធកវិន័យ គម្ពីរមហាវគ្គមកចារឹកទុកក្នុងគម្ពីរព្រះវិសុទ្ធិមគ្គថា ។

ទីឃានិ កេសនខលោមានិ ឆិន្ទិតព្វានិ ជិណ្ណចីវ-រេសុ ឧទ្ធគ្គំ កម្មំ តុន្នកម្មំ កត្តព្វំ កិលិដ្ឋានិ រជិតព្វានិ សចេ បត្តេ មលំ ហោតិ បត្តោ បចិតព្វោ មញ្ចបីឋាទីនិ សោធេតព្វានីតិ ។

អធិប្បាយថា បើសក់និងពុកមាត់ ពុកចង្កា និង ក្រចកម្រាមដៃជើងនិងរោមទាំងឡាយដុះឡើងវែង ភិក្ខុទាំងឡាយគប្បីកោរកាត់ចេញ សំពត់ចីវរសម្រាប់ស្លៀកដណ្តប់ចាស់គ្រាំគ្រា គប្បីធ្វើទឡ្ហីកម្ម គឺកិរិយាប៉ះថែមបំពេញឲ្យមាំជាដើម ឬធ្វើតុន្នកម្ម កិរិយាដែលដូសដុលជាដើម បើសំពត់ចីវរទាំងឡាយប្រឡាក់មន្ទិលសៅហ្មង គប្បីបោកគក់ជ្រលក់ដុសលាងឲ្យល្អ ជាបើមានមន្ទិលច្រេះស្នឹមសៅហ្មងកើតឡើងក្នុងបាត្រ បាត្រនោះភិក្ខុគប្បីដុសខាត់លាបប្រេង ដុត ឬ ហាលថ្ងៃឲ្យស្អាតល្អ ។

ទីដេក ទីអង្គុយទាំងឡាយ មានគ្រែ និង តាំងជាដើម ភិក្ខុគប្បីដុសខាត់បោសប្រាសជូតសំអាតទូរសម្រាម និង ផង់ធូលីឲ្យស្អាតល្អៗ ដែលអង្គសម្តេចព្រះសព្វញ្ញូជាម្ចាស់ ទ្រង់អនុញ្ញាតដូចអធិប្បាយមកនេះ ព្រះ

អង្គមិនអនុញ្ញាតចំពោះតែភិក្ខុនោះទេ ព្រះអង្គទ្រង់អនុញ្ញាតសាធារណទូទៅដល់អ្នកបួស និង គ្រហស្ថដែលជាសប្បុរសទាំងអស់ គប្បីប្រតិបត្តិតាម ។

ព្រោះព្រះអង្គទ្រង់ឃើញយល់ ទោសដែលបុគ្គលមិនប្រព្រឹត្តសំអាតនេះច្រើនប្រការណាស់ មានរោគ កម រមាស់ និង ធ្វើចិត្តខ្លួនមិនឲ្យស្អាតផូរផង់បរិសុទ្ធជាដើម ហើយព្រះអង្គទ្រង់យល់គុណប្រយោជន៍ ដែលបុគ្គលប្រព្រឹត្តសំអាតជាមង្គលនិងសេចក្ដីសុខ សេចក្ដីចម្រើនក្នុងបច្ចុប្បន្ននេះ គឺមានចិត្តរបស់ខ្លួនផូរផង់ស្អាតបរិសុទ្ធ ជាហេតុនឹងមិនឲ្យមានរោគជាដើម ប្រយោជន៍ក្នុងបរលោក អធិប្បាយថា បើបុគ្គលបានប្រព្រឹត្តសំអាតវត្ថុខាងក្រៅឲ្យស្អាតបរិសុទ្ធល្អហើយ វត្ថុខាងក្នុងគឺចិត្តនិងចេតសិក ក៏នឹងកាន់យកនូវវត្ថុខាងក្រៅ ដែលស្អាតបរិសុទ្ធល្អនោះមកជាអារម្មណ៍ និងផូរផង់ស្អាតបរិសុទ្ធទៅតាមវត្ថុខាងក្រៅនោះឯង បើនឹងបរិច្ចាគទ្រព្យឲ្យទាន ក៏នឹងបានផលានិសង្សច្រើនបរិសុទ្ធល្អ បើនឹងចម្រើនភាវនា និងញ៉ាំងគុណវិសេសមានឈានជាដើមឲ្យកើតឡើងបានដោយងាយ ។

ហេតុដូចនេះ សាធុជនទាំងឡាយដែលប្រាថ្នាសេចក្ដីសុខ សេចក្ដីចម្រើនគប្បីប្រព្រឹត្តតាមន័យ ដែលបានអធិប្បាយមកនេះចុះ សមគួរតាមពុទ្ធានុញ្ញាតពិត ។

ម្យ៉ាងទៀត ព្រះសម្មាសម្ពុទ្ធព្រះអង្គទ្រង់សម្ដែងប្រាប់ទោស នៃ

បុគ្គលដែលខ្ជិលប្រមូសមិនលុបលាងជម្រះញើសក្អែលមន្ទិលមុខមាត់ធ្មេញ ដោយប្រាសនិងឈើស្ទន់ជាដើម ជានឹងមានទោស ៥ ប្រការ ដូចមានបាលីក្នុងគម្ពីរសោត្តសង្គហ ខ្សែ ១១ ថា :

បញ្ចិមេ ភិក្ខវេ អាទីនវា ទន្តកដ្ឋស្ស អខាទនេ កត-មេ បញ្ច អចក្ខុស្សំ មុខំ ទុគន្ធំ ហោតិ រសាហរណីយោ ន វិសុជ្ឈន្តិ បិត្តំ សេម្ហំ ភត្តំ ន បរិយោនទ្ធតិ ភត្តមស្ស នច្ឆាទេតិ ឥមេ ខោ ភិក្ខវេ បញ្ចាទីនវា ទន្តកដ្ឋស្ស អខាទនេ សេចក្ដីថា ម្នាលភិក្ខុទាំងឡាយ ទោសទាំងឡាយ ៥ ប្រការនេះកើតមានប្រាកដក្នុងកិរិយាមិនទំពាស៊ូនូវឈើស្ទន់ គឺជាបុគ្គលខ្ជិលប្រមូសមិនលាងលុបជម្រះមន្ទិលញើសក្អែលមុខមាត់ធ្មេញ ដោយឈើស្ទន់ ឬប្រាសឲ្យស្អាតម៉ត់ចត់ល្អ កតមេបញ្ច ម្នាលភិក្ខុទាំងឡាយទោសទាំង ៥ ប្រការនោះដូចម្ដេចខ្លះ ។

ព្រះអង្គទ្រង់សម្ដែងវិសជ្ជនា ដោយព្រះអង្គឯង ថាទោសទាំង ៥ ប្រការនោះគឺ :

១- សេចក្ដីសាបសូន្យកើតឡើងដល់ភ្នែក បង្កើតឲ្យមានរោគងងឹត និងស្រវាំងឈឺចាប់ក្នុងភ្នែក ។

២- មាត់មានក្លិនស្អុយជាទីខ្ពើមរអើមដល់ខ្លួនឯង និងអ្នកដទៃ ។

៣- សរសៃដែលជាទីទទួលនូវរសអាហារមិនស្អាតបរិសុទ្ធល្អ ជា

ហេតុឲ្យបរិភោគអាហារមិនមានរសជាតិឆ្ងាញ់ពិសាបរិសុទ្ធល្អ ។

៤- ប្រមាត់និងស្លេស្ម មិនគ្របសង្កត់រួបរឹតជក់យកនូវជាតិបាយ ទឹកស្អាតល្អ ។

៥- បុគ្គលនោះមិនឃ្លានបាយ បាយមិនគាប់ចិត្ត បរិភោគមិនសូវបាន កើតជារោគស្គមក្រហមលឿង ។

ម្នាលភិក្ខុទាំងឡាយ ទោសទាំង ៥ ប្រការនេះ បង្កើតមានពិតប្រាកដដល់បុគ្គលដែលឈ្លួលសំអាតកាយមានមិនលាងលុបជម្រះមុខមាត់មន្ទិលធ្មេញជាដើម ដោយឈើស្ទន់ ឬ ប្រាស ឲ្យស្អាតល្អ ។

អង្គសម្តេចព្រះទសពលញាណ ទ្រង់សម្តែងប្រាប់ទោសយ៉ាងនេះហើយ ព្រះអង្គទ្រង់សម្តែងប្រាប់អានិសង្សជាខាងក្រោយ ដោយពរបាលីថា :

បញ្ចិមេ ភិក្ខវេ អានិសំសា ទន្តកដ្ឋស្ស ខាទនេ
កតមេ បញ្ច ចក្ខុស្សំ មុខំ ទុគ្គន្ធំ ន ហោតិ រសាហរណិ
យោ វិសុជ្ឈន្តិ បិត្តំ សេម្ហំ ភត្តំ បរិយោនន្ធតិ ភត្តមស្ស ឆា-
ទេតិ ឥមេ ខោ ភិក្ខវេ បញ្ច អានិសំសា ទន្តកដ្ឋស្ស ខាទនេ ។

សេចក្តីថា ម្នាលភិក្ខុទាំងឡាយ អានិសង្សទាំងឡាយ ៥ ប្រការនេះ កើតមានប្រាកដក្នុងកិរិយាទំពាស៊ីនូវឈើស្ទន់ គឺថាបុគ្គលមានឧស្សាហ៍ព្យាយាមលាងលុបជម្រះមន្ទិលញើស ក្អួលមុខមាត់ធ្មេញដោយឈើស្ទន់ឬប្រាសឲ្យស្អាតម៉ត់ចត់ល្អ កតមេបញ្ច ម្នាលភិក្ខុទាំងឡាយ

អានិសង្សទាំង ៥ ប្រការនោះដូចម្ដេចខ្លះ ព្រះអង្គវិសជ្ជនាដោយព្រះអង្គឯង ថា អានិសង្សទាំង ៥ ប្រការនោះគឺ :

១- សេចក្ដីសាបសូន្យមិនមានដល់ភ្នែកជាប្រយោជន៍ គឺមានភ្នែកថ្លាល្អ មិនងងឹត មិនស្រវាំង មិនមានរោគឈឺចាប់កើតឡើងក្នុងភ្នែក ។

២- មាត់មានក្លិនស្អុយមិនមាន ។

៣- សរសៃទាំងឡាយ ដែលជាទីទទួលនូវរសអាហារស្អាតបរិសុទ្ធល្អ ។

៤. ប្រមាត់និងស្លេស្ម គ្របសង្កត់ប្រែតែជក់យកជាតិបាយទឹកស្អាតបរិសុទ្ធល្អ ។

៥- បាយទឹកជាទីគាប់ចិត្តនៃបុគ្គលនោះ បរិភោគអាហារបានមិនគ្រាន់ មិនឆ្អែម មិនបង្កើតជារោគស្គម ។

ម្នាលភិក្ខុទាំងឡាយ អានិសង្សទាំង ៥ នេះ កើតឡើងពិតប្រាកដដល់បុគ្គលដែលមានឧស្សាហ៍ព្យាយាម លាងលុបជម្រះមុខមាត់មន្ទិលធ្មេញ ដោយឈើស្ទន់ជាដើម ដូច្នេះយើងទាំងឡាយគប្បីប្រតិបត្តិតាមព្រះពុទ្ធភាសិត ដូចបានអធិប្បាយមកនេះចុះ នឹងបានសេចក្ដីសុខ សេចក្ដីចម្រើនក្នុងលោកនេះ និងលោកខាងមុខពិត ។

ន័យមួយទៀតលោកសម្ដែងថា បុគ្គលដែលនឹងបរិភោគអាហារត្រូវឲ្យពិនិត្យពិចារណាក្នុងថ្ងៃ ១ បើបរិភោគច្រើនវេលា ត្រូវឲ្យបរិភោគអាហារដែលទន់ ៗ មុន កុំឲ្យបរិភោគដែលរឹង ៗ មុន បើបរិភោគអាហារ

រឹងៗមុន ហើយបរិភោគអាហារដែលទន់ៗក្រោយ អាហារដែលទន់ៗ នោះ នោះរលួយទៅឆាប់ អាហារដែលរឹងនោះរលួយទៅមិនទាន់នាំឲ្យ ទ័ណ្ណាឲ្យស្ទះពោះវៀនខ្យល់ប្រព្រឹត្តទៅពុំស្រួល ជាហេតុនឹងឲ្យកើតនូវ រោគឈឺពោះ ចុកសៀតជាដើម ។

ព្រោះហេតុដូច្នេះ បានជាអង្គសម្តេចព្រះមុនិន្ទជិនស្រី ព្រះអង្គទ្រង់ អនុញ្ញាតឲ្យភិក្ខុសាមណេរឆាន់បបរមុនភត្ត ហើយទ្រង់សម្តែងប្រាប់អានិ-សង្សបបរទាំង ១០ ប្រការ ចំពោះនឹងព្រាហ្មណ៍ម្នាក់ មានក្នុងគម្ពីរមហាវគ្គ ខ្សែ ១៦ ថា៖

ទសយិមេព្រាហ្មណ អានិសំសា យាគុយា
កតមេទស យាគុំ ទេន្តោ អាយុំ ទេតិ
វណ្ណំ ទេតិ សុខំ ទេតិ ពលំ ទេតិ
បដិភាណំ ទេតិ យាគុបីតា ខុទ្ទំ បដិហនតិ
បិបាសំ បដិវិនោទេតិ វាតំ អនុលោមេតិ
វត្ថឹបរិសោធេតិ អាមាវសេសំ បាចេតិ
ឥមេខោព្រាហ្មណ ទសានិសំសា យាគុយាតិ ។

អធិប្បាយថា ម្នាលព្រាហ្មណ៍ អានិសង្សបបរទាំងឡាយមាន ១០ ប្រការនេះ បង្កើតមានប្រាកដដល់បុគ្គលអ្នកបរិភោគ និង បុគ្គលអ្នកឲ្យ កតមេទស អានិសង្ស បបរទាំងឡាយមាន ១០ ប្រការនោះ គឺបុគ្គលអ្នកឲ្យនូវបបរឈ្មោះថា ឲ្យអាយុជីវិត ១, ឲ្យនូវពណ៌សម្បុរល្អ ១, ឲ្យនូវ

សេចក្តីសុខសប្បាយ ១, ឲ្យនូវកម្លាំងខ្លាំង ១, ឲ្យនូវប្រាជ្ញាឆ្លៀវឆ្លាសក្នុងសំដីនិយាយ ១, បបរគឺបុគ្គលផឹកហើយកំចាត់បង់នូវសេចក្តីឃ្លាន ១, បន្ទោបង់ចំពោះនូវសេចក្តីសម្រេកស្រេកទឹក ១, ញុំាងខ្យល់ក្នុងពោះវៀនឲ្យប្រព្រឹត្តទៅតាមស្រួល ១, ញុំាងពោះវៀន តូច-ធំ ឲ្យស្អាតបរិសុទ្ធដោយជុំវិញ ១, ញុំាងអាហារចាស់ដំសេសសល់ ដែលខ្លួនបរិភោគមុនមិនទាន់ទ្រុឌទ្រោមទៅ ឲ្យទ្រុឌទ្រោម ស្អាតល្អ ១ ។

ម្នាលព្រាហ្មណ៍ អានិសង្សបបរទាំង ១០ ប្រការនេះ នឹងបង្កើតមានប្រាកដដល់បុគ្គលអ្នកបរិភោគជាប្រយោជន៍ក្នុងបច្ចុប្បន្ន បង្កើតមានប្រាកដ ដល់បុគ្គលអ្នកឲ្យទានបបរជាប្រយោជន៍ក្នុងលោកខាងមុខ ហេតុដែលព្រះសម្មាសម្ពុទ្ធទ្រង់អនុញ្ញាតឲ្យបរិភោគបបរជាអាហារទន់ មុនបាយព្រោះបាយជាអាហាររឹង ដើម្បីសង្គ្រោះដល់ភិក្ខុសាមណេរ នឹងមិនឲ្យបង្កើតរោគជារោគ និង សម្រេចនូវអានិសង្សទាំង ១០ ប្រការ ដូចបានពណ៌នាមកនេះឯង សប្បុរសទាំងឡាយគប្បីប្រតិបត្តិតាមន័យ ដែលបានអធិប្បាយមកនេះចុះ នឹង បានសេចក្តីសុខ សេចក្តីចម្រើនក្នុងលោកនេះនិងលោកខាងមុខ ។ ន័យមួយទៀតលោកសម្តែងថា បុគ្គលនឹងប្រព្រឹត្តធ្វើរាងកាយរបស់ខ្លួន មិនឲ្យមានរោគ មិនឲ្យលំបាក ឲ្យប្រព្រឹត្តស្រួលក្នុងបច្ចុប្បន្ននេះ គប្បីប្រព្រឹត្តចង្រ្កមគឺ ដើរទៅដើរមកឲ្យស្រួលសរសៃ និងបានអានិសង្ស ៥ យ៉ាងដូចមានបាលីក្នុងគម្ពីរសារត្ថសង្គហខ្សែ ១១ ថា ៖ បញ្ចិមេភិក្ខវេ ចង្កមេអានិសំសា កាតមេបញ្ចា

អទ្ធានក្ខមោ ហោតិ អប្បាពាធោ ហោតិ អសិតបីតខា
យិតសាយិតំ សម្មាបរិណាមំ គច្ឆតិ ចង្កមាធិគតោ
សមាធិ ចិរដ្ឋិតិកោ ហោតិ ឥមេខោ ភិក្ខវេ បញ្ចានិសំ
សា ចង្កមេ ។

សេចក្តីប្រែតាមពុទ្ធភាសិតថា ម្នាលភិក្ខុទាំងឡាយ អានិសង្ស ទាំងឡាយ ៥ យ៉ាងនេះ នឹងបង្កើតមានប្រាកដដល់អ្នកប្រព្រឹត្ត ចង្ក្រម គឺជាប្រព្រឹត្តដើរដោយប្រក្រតី កតមេបញ្ច ម្នាលភិក្ខុទាំងឡាយ ៥ យ៉ាងនោះដូចម្តេចខ្លះ ព្រះអង្គទ្រង់សម្តែង វិសជ្ជនាដោយព្រះអង្គឯងថា ៖ ម្នាលភិក្ខុទាំងឡាយ អានិសង្សចង្ក្រម ៥ យ៉ាងនោះ គឺ បុគ្គលអ្នក ព្យាយាមដើរទៅដើរមក ប្រព្រឹត្តសង្រួមកាយនោះ បើត្រូវការនឹងដើរ ទៅកាន់ផ្លូវឆ្ងាយនឹងអាចអត់ធន់ដើរ មិនសង្កៀរជើង មិនឈឺជើង ចុក ខ្នងចង្កេះជាដើម ១ និងមានព្យាយាមជាគ្រឿងតម្កល់មាំ ១, មានជម្ងឺអា ពាធចុកសៀតតិច ១, វត្ថុគឺបាយនិងអាហារគោជនដែលខ្លួនស៊ី ផឹក ហិត ភក្ស នឹងដល់នូវកិរិយាទ្រុឌទ្រោមទៅដោយប្រពៃ ១, សមាធិគឺកិរិយា តម្កល់ចិត្តមាំ ក្នុងគុណវិសេសទាំងពួង ដែលខ្លួនបានត្រាស់ដឹងក្នុងវេលា ដែលដើរចង្ក្រមនោះ និង ស្ថិតនៅអស់កាលយូរមិនភ្លេចទៅបាត់ ១ ។ ម្នាលភិក្ខុទាំងឡាយ អានិសង្សទាំង ៥ យ៉ាងនេះ នឹងបង្កើតពិតប្រាកដ ដល់អ្នកប្រព្រឹត្តចង្ក្រម ដែលអង្គសម្តេចព្រះបរមគ្រូជាម្ចាស់ទ្រង់អនុញ្ញាត ឲ្យចង្ក្រមដើរទៅ ដើរមកនេះ មិនចំពោះតែលោកអ្នកចម្រើនព្រះ កម្មដ្ឋាន

ប៉ុណ្ណោះទេ ទោះបីបុគ្គលឯណា ៗ ក្តី ក៏គប្បីប្រព្រឹត្តកិរិយាបថដើរនេះចុះ ជាហេតុនឹងឲ្យបានអានិសង្សទាំង ៥ ប្រការដូចគ្នា ។

សម្តែងមកអំពីកាយបរិគោតវត្ត បទមាតិកាជាបឋម ចប់សេចក្តីជាសង្ខេបតែប៉ុណ្ណោះ ។

២- ភូមិវត្តបទ មាតិកាទី ២ និយាយពីកិរិយាសំអាតវត្ត គឺផែនដីទីនៅនោះ អធិប្បាយថាភិក្ខុសាមណេរគប្បីធ្វើអំបោស បោសប្រាសទីលានព្រះវិហារ និងលានព្រះចេតិយឲ្យស្អាតរាបស្មើល្អ កុំឲ្យមានសម្រាម ទីត្រង់ណាដែលគគ្រិកគគ្រាក់ មានភក់ និងជ្រាំជាដើម មិនស្អាតមិនរាបល្អ ត្រូវយកនាស់កស់យកសម្រាមចេញ ហើយយកដីមានដីខ្សាច់ជាដើម មកចាក់លុបទីនោះ បំបាត់ក្លិនស្អុយអាក្រក់នោះចេញ ដើម្បីនឹងកក្រាក់កាយមិនឲ្យផ្សាយក្លិនសំអុយ ចូលមកក្នុងកាយនឹងក្លាយបង្កើតជារោគគ្រុនរងា កើតពិសនិងអហិវាតករោគជាដើម ដោយផ្លូវដែលផ្សាយខ្យល់បក់ក្លិនអាក្រក់ បំបាយធាតុអាកាសជាខាងក្រៅ ចូលមកតាមធាតុអាកាសជាខាងក្នុង ដែលមានជាចន្លោះ ៗ ក្នុងរូបយើងនេះ ដែល នាំឲ្យមានរោគផ្សេង ៗ បើទីត្រង់ណាស្មៅដុះមានរាណាទៀត ភិក្ខុនឹងទៅធ្វើឲ្យដកបេះលើកឃ្លាតចាកទីពុំគួរ នឹងត្រូវអាបត្តិបាចិត្តិយក្នុងភូតគាមសិក្ខាបទ ត្រូវឲ្យអនុបសម្បន្ន ដែលជាវេយ្យាវច្ចករចាត់ចែងទើបគួរ ថាបើជាគ្រហស្ថ គឺឧបាសកឧបាសិកាវិញ ក៏គប្បីបោសប្រាសផែនទីស្ថានលំនៅរបស់ខ្លួនឲ្យស្អាតបរិសុទ្ធល្អ នឹងកើតមានសិរីសួស្តី

បានសេចក្ដីសុខសប្បាយ មានមិនកើតរោគជាដើម ក្នុងបច្ចុប្បន្ននេះ ។

ថាបើគ្រហស្ថមានប្រាថ្នានូវប្រយោជន៍ក្នុងបរលោក គឺគប្បីចូកជម្រះបោសប្រាសនូវទីវត្តអារាម ព្រះវិហារ នឹងបានផលានិសង្សច្រើន បានសេចក្ដីសុខសេចក្ដីចម្រើនទៅខាងមុខ រាប់ពុំបាន ។

ដូចមានបាលីដែលព្រះអាចារ្យ លោកបានដកស្រង់មកអំពីគម្ពីរបរិវារវិន័យ មកចារឹកទុកក្នុងគម្ពីរសារត្ថសង្គហខ្សែ ២ សរសើរផលានិសង្ស បោសសំអាតទីនៅផ្សេង ៗ ដោយរាប់បាលីពុទ្ធភាសិតថា បញ្ចានិសំសា សម្មជ្ជនិយា សេចក្ដីថា អានិសង្សទាំងឡាយនៃបុគ្គល ដែលបានបោសសំអាតផែនដីទីលំនៅផ្សេង ៗ មាន ៥ ប្រការ ឯអានិសង្សបោសសំអាតទីនៅផ្សេង ៗ មាន ៥ ប្រការនោះគឺ :

សកំ ចិត្តំ បសីទតិ បុគ្គលអ្នកមានឧស្សាហ៍បោសសំអាត នឹងញ៉ាំងចិត្តចេតសិករបស់ខ្លួនឲ្យជ្រះថ្លា ស្អាតផូរផង់បរិសុទ្ធល្អ បើធម្មជាតិខាងក្នុងស្អាតបរិសុទ្ធល្អហើយ នឹងបានកេតកើតមកពីណា ? វិញ្ញាណនឹងចាប់យកទីដែលស្អាតបរិសុទ្ធមកជាអារម្មណ៍ ហើយនឹងប្រែគំនិតដែលមិនស្អាតផូរផង់នោះឲ្យស្អាតផូរផង់ទៅតាមអារម្មណ៍នោះបាន បើនឹងចម្រើនព្រះកម្មដ្ឋាន ចាប់យកព្រះពុទ្ធគុណជាដើមជាអារម្មណ៍ និង ញ៉ាំងបីតិ និងបាមោជ្ជឲ្យកើតឡើងប្រាកដ ចេតនាដែលស្អាតផូរផង់ និងពិចារណាកំណត់នូវសំខារជា អនិច្ចំ ទុក្ខំ អនត្តា រឿយ ៗ ទៅបានបើមានឧបនិស្ស័យចាស់ គឺនឹងត្រាស់ដឹងនូវមគ្គផលក្នុងពេលនោះ បើគ្មានឧបនិស្ស័យ ទេ

ក៏គង់បានផលានិសង្ស ជាវាសនាបារមីទៅខាងមុខនឹងបានសម្រេចមគ្គផល ក្នុងម្នាក់ ព្រះពុទ្ធជាអនាគតមិនខាន លោកសម្តែងអាងនិទានថាដូច បុស្សទេវត្ថេរ បានបោសសំអាតលានព្រះចេតិយហើយ សំឡឹងមើល លានព្រះចេតិយដែលស្អាតល្អហឫទ័យរបស់លោកក៏ស្អាតផូរផង់ ទៅតាម អារម្មណ៍នោះ ចាប់យកព្រះពុទ្ធគុណជាអារម្មណ៍ ញុំាងបីតិឲ្យកើតឡើង បានសម្រេចមគ្គផលក្នុងវេលានោះឯង ដូចទត្តភិក្ខុ នៅក្នុងកណ្ឌវិហារ បានបោសសំអាតនូវលានព្រះចេតិយ ហើយបានសម្លឹងមើលនូវទីដែល ខ្លួនសំអាតនោះ បានចំពោះនូវឱទាតកសិណ ញុំាងសមាបត្តិទាំង ៨ ឲ្យកើតឡើង ចម្រើននូវវិបស្សនាតទៅទៀត បានសម្រេចព្រះអរហត្ត ផលក្នុងវេលានោះ ដោយផលដែលបានបោសសំអាតនោះឯង អានិសង្ស ជាគម្រប់ ២ គឺបរចិត្តំ បសីទតិ គឺបុគ្គលអ្នកមានឧស្សាហ៍បោសសំអាត ទីលំនៅផ្សេងៗ និង ញុំាងចិត្ត នៃបុគ្គលដទៃឲ្យជ្រះថ្លាផូរផង់ល្អពិព្រាយ ថា បុគ្គលទាំងឡាយដែលមានបណ្ដាសក្តិ ឥតបណ្ដាសក្តិ បានដើរ ទៅឃើញទីកន្លែងត្រង់ណា មានទីអារាមព្រះវិហារជាដើម ដែលបុគ្គល បានចូកជម្រះបោសប្រាសសំអាត ឲ្យស្អាតពងខាងល្អ និង មានចិត្តជ្រះថ្លា ផូរផង់ស្រឡាញ់រាប់អានបុគ្គលនោះ ដោយពិតលោកសម្តែងអាងនិទាន ដូចជា តិស្សភិក្ខុនៅក្នុងជម្ពូកោលវិហារ បានបោសសំអាតនូវលាន ព្រះចេតិយ ហើយបញ្ចូនសម្រាមយកទៅចាក់ចោលវេលានោះ មាន ព្រះថេរមួយអង្គឈ្មោះ តិស្សទត្តថេរចុះអំពីសំពៅ ហើយក្រឡេកមើល

លានព្រះចេតិយ ដែលភិក្ខុនោះបោសសំអាត ហើយមានសេចក្តីជ្រះថ្លា សួរ បញ្ហាចំពោះនឹងភិក្ខុនោះ ភិក្ខុនោះក៏បានវិសជ្ជនាដោះស្រាយបញ្ហា នោះដកបដល់ចប់ទៅ ។

មានព្រះថេរបួនព្រះអង្គទៀតបានមកដល់ហើយបានឃើញលានព្រះ ចេតិយស្អាតល្អ ដើរចូលទៅតាំងក្នុងមានចិត្តថ្លាផងល្អ ញុំាងជាតិស្សរៈ ញាណឲ្យបង្កើតឡើង ព្រះថេរៈអង្គ ១ បានរឭកជាតិបាន ៨ កប្ប ព្រះថេរអង្គ ១ រឭកជាតិបាន ១៦ កប្ប, ព្រះថេរអង្គ ១ រឭកជាតិបាន ២០ កប្ប, ព្រះថេរអង្គ ១ រឭកជាតិបាន ៣០ កប្ប, ដោយចិត្តដែល ជ្រះថ្លាផូរផង់នោះឯង ។

អានិសង្សជាគម្រប់ ៣ គឺទេវតាអគ្គមនាលោកិ ទេវតាទាំងពួងនឹង មានចិត្តរីករាយជ្រះថ្លា ស្រឡាញ់រាប់អាននូវបុគ្គលអ្នកបោសសំអាតនោះ លោកសម្តែងអានិសង្សថាដូចភិក្ខុ ១ អង្គនៅក្នុងវិហារមួយ ព្យាយាម បោសសំអាតនូវលានព្រះចេតិយ ទៀនព្រះពោធិព្រឹក្ស និងទីអារាមព្រះ វិហារនោះស្អាតស្មើល្អ ទេវតាទាំងឡាយដែលនៅអាស្រ័យក្នុងទីនោះ មានចិត្តជ្រះថ្លាបានយកផ្កាមកបូជាដល់ភិក្ខុនោះ ហើយបានថ្វាយរក្សា ភិក្ខុនោះឲ្យបានសេចក្តីសុខ ។

អានិសង្សជាគម្រប់ ៤ គឺ ឆាសាធិកាសំវត្តនិកាំ បុញ្ញឧប ចិណាតិ បុគ្គលអ្នកបោសសំអាតឈ្មោះថា ចូលទៅជិតសន្សំនូវបុញ្ញកុសល ជាទីញុំាងចិត្តជ្រះថ្លាឲ្យប្រព្រឹត្តទៅព្រមដល់ទីប្រជុំជនទាំងឡាយ គេនឹង

ពណ៌នាសរសើរដោយអាការផ្សេងៗ ។

អានិសង្សជាគម្រប់ ៤ គឺ កាយស្ស ភេទា បរម្មរណា សុគតិំ សគ្គំ លោកំ ឧបបជ្ជតិ សេចក្តីថា បុគ្គលដែលបានធ្វើសមជ្ជការណ៍កិច្ចទាំងនោះបើធ្វើមរណកាលរំលាយនូវរាងកាយទៅខាងមុខ នឹង បានទៅកើតក្នុងសុគតិ គឺជាតិជាមនុស្ស និង ក្នុងលោក គឺស្ថានសួគ៌ដោយពិត អានិសង្សទាំង ៤ ប្រការនេះនឹងកើតឡើងប្រាកដដល់បុគ្គលអ្នកព្យាយាមសមជ្ជនកិច្ចទាំងនោះមានអារាមព្រះវិហារជាដើមៗ ដូច្នេះសប្បុរសទាំងឡាយគប្បីប្រតិបត្តិតាមព្រះពុទ្ធភាសិត ដូចបានអធិប្បាយមកនេះ ចុះនឹងបានប្រយោជន៍ទាំងពីរប្រការ គឺប្រយោជន៍ក្នុងបច្ចុប្បន្នលោកនេះនិងប្រយោជន៍ក្នុងបរលោក ដោយផលានិសង្សដែលបានពោលប្រាប់នេះឯង ។

សម្តែងមកអំពីភូមិវត្តបទមាតិកា ជាគម្រប់ពីរចប់សេចក្តីជាសង្ខេបប៉ុណ្ណោះ ។

ពីនេះទៅនឹងសម្តែងសព្វកម្មន្តវត្តបទមាតិកាជាគម្រប់ ៣ តទៅទៀត ។

៣- សព្វកម្មន្តវត្ត គឺប្រព្រឹត្តសំអាតវត្ត គឺ ការងារទាំងក្នុងនោះ អធិប្បាយថា បុគ្គលជាអ្នកប្រាជ្ញ មានប្រាជ្ញានៅគ្រប់គ្រងផ្ទះជាឃរាវាសនេះដែលនឹង តាំងខ្លួនឲ្យជាអ្នកមានទ្រព្យសម្បត្តិបាននោះ គប្បីប្រកបការងារឲ្យស្អាតល្អ មានប្រកបការងារធ្វើស្រែចំការ និង រក្សាគោក្របីនិងជំនួញផ្លូវទឹក ផ្លូវគោកជាដើម មិនឲ្យរើកប្រាសចាកអំពើមិនចម្រើន មានកិរិយាប្រព្រឹត្តកន្លងនៅកាលគួរធ្វើនិងកិរិយាប្រកបការងារដ៏សមគួរ និង ខ្ជិលមិន

ធ្វើនូវការងារឲ្យធូរពេកជាដើម ហើយត្រូវប្រកបការងារ ឲ្យប្រកបព្រម ដោយហេតុទាំង ៤ ប្រការគឺ កាលញ្ញូ ដឹងនូវកាលវែង កាលចម្រើន ១, បតិរូបការី ធ្វើនូវការងារដ៏សមគួរ និង ញុំាងទ្រព្យសម្បត្តិឲ្យចម្រើន ឡើងមិនឲ្យខាតខូចវិនាសទៅ ១, អនលសតាការ មិនប្រព្រឹត្តខ្ជិលច្រអូស អាងកាលវេលាខុស ១, ឧដ្ឋានវីរិយសម្បទា បរិបូណ៌ដោយព្យាយាមជា ហេតុក្រោកឡើងមិនធុញថប់ ១, អនព្យសនិយតាការប្រព្រឹត្តញុំាងខ្លួន និង កូនប្រពន្ធ និងការងារទាំងឡាយមិនឲ្យវិនាសខូចខាតទៅ ១, បុគ្គលអ្នក ប្រកបការងារមិនរីករ យ៉ាងនេះ នឹងបាននូវទ្រព្យពិត ព្រោះហេតុដូច្នោះ បានជាអង្គសម្តេចព្រះដ៏ទ្រង់នូវព្រះភាគ កាលព្រះអង្គសម្តែងធម៌ទេសនា ដល់អាឡវកយក្ស ក្នុងគម្ពីរយក្ខសំយុត្តដោយព្រះគាថាបតិរូប កោរិធុរេ ឧដ្ឋាតាវិន្ទតេធនំ ;សេចក្តីថា បុគ្គលជាអ្នកប្រាជ្ញញុំាងកិច្ចទាំងឡាយមាន បរទេសនិងកាលជាដើម មិនឲ្យសាបសូន្យទៅហើយធ្វើនូវឧបាយជាហេតុ បាននឹងត្រាស់ដឹងដ៏សមគួរដល់ទ្រព្យជា លោកិយនិងលោកុត្តរ មានធុរ មិនដាក់ចុះ ដោយអំណាចដែលមានព្យាយាមប្រកបចាំក្នុងចិត្ត បរិបូណ៌ ដោយព្យាយាមជាហេតុក្រោកឡើងមិនបន្ធូរបន្ថយដោយអំណាចព្យាយាម ដែលប្រកបចាំក្នុងកាយ បុគ្គលប្រព្រឹត្តយ៉ាងនេះទៀតតែនឹងបាននូវទ្រព្យ ជាលោកិយនិងលោកុត្តរពិត ដូចមានបាលីក្នុងចុឡសេដ្ឋី ជាតកវណ្ណនា ក្នុងបឋមវគ្គនៃគម្ពីរឯកនិបាតលោកសម្តែងអាងនិទានថា ដូចបុរសកំសត់ ម្នាក់ជាកូនក្មួយនៃចុឡសេដ្ឋី ។

ជាអ្នកប្រាជ្ញមានព្យាយាមល្អ បានឮពាក្យចុល្លកសេដ្ឋី ជានាយនិយាយថា កណ្តុរស្លាប់នេះ បើអ្នកឯណាមានព្យាយាមល្អ រើសយកទៅលក់នឹងញុំាងទ្រព្យសម្បត្តិឲ្យកើតឡើង នឹងបានជាអ្នកមានទ្រព្យច្រើនក្នុងនគរនេះ ឯបុរសកម្សត់នោះ ក៏រើសយកសត្វកណ្តុរស្លាប់នោះ ទៅលក់ឲ្យជនអ្នកចិញ្ចឹមឆ្មាជាដើម ហើយប្រកបការដំនួញដើរទឹកដើរគោក មិនយូរប៉ុន្មានកំណត់បាន ៤ ខែ បានទ្រព្យ ៤ សែនកហាបណ សេដ្ឋីជាម្ចាស់មានសេចក្តីត្រេកអរពេញចិត្ត ហើយបានឲ្យកូនស្រីរបស់ខ្លួន ជាប្រពន្ធនៃបុរសនោះ បុរសនោះក៏បានជាសេដ្ឋីធំមានទ្រព្យច្រើន ចាប់ដើមតាំងពីថ្ងៃនោះទៅដោយផល ដែលបានប្រកបការងារស្អាតល្អនោះឯង ឯសម្បត្តិជាលោកុត្តរវិញ លោកសម្តែងជានិទានថា ដូចជាព្រះថេរអង្គមួយ ឈ្មោះមហាលុក មហាតិស្សលោកមានព្យាយាមល្អ មិនខ្ជិលច្រអូសនឹងបម្រើនព្រះកម្មដ្ឋាន វេលាណាដែលសេចក្តីខ្ជិលនិងងងុយមកគ្របសង្កត់លោក យកចម្បើងមកជ្រលក់ទឹក ដាក់លើក្បាល ដើរចុះទៅក្នុងទឹកប្រមាណត្រឹមក ដើម្បីឃាត់នូវសេចក្តីខ្ជិល និងងងុយនោះ ទំព្យាយាមកន្លងទៅ អស់ ១២ ឆ្នាំហើយ បានសម្រេចព្រះអរហត្តផល ល្បីទៅក្នុងជម្ពូទ្វីបជាអស្ចារ្យដោយផលានិសង្ស ដែលព្យាយាមល្អនោះឯង ម្យ៉ាងទៀតបាលីក្នុងគម្ពីរមង្គលទីបនីអដ្ឋកថាមង្គលសូត្រខ្សែ ១២ លោកសម្តែងថា:

យោបនសកាល និវេសកាតំសុបិតា កាមេត្តួន ការេតិ ជាដើម អធិប្បាយថា បុគ្គលមែនឯណាប្រព្រឹត្តដេកលក់អស់ចំណែកថ្ងៃតាំងអស់ មិនធ្វើការងារទាំងឡាយ វេលាយប់ក៏មិនក្រោកឡើងប្រារព្ធធ្វើនូវការងារទាំងឡាយនោះ ឬអ្នកស្រវឹងដោយសុរាជានិច្ច ឬជាអ្នកលេងក្នុងល្បែងទាំងពួង មានល្បែងស្រីនិងបៀរប៉ោជាដើម បុគ្គលនោះឈ្មោះថាធ្វើនូវការងារទាំងឡាយរបស់ខ្លួនឲ្យវិកលព្រោះតែខ្លួនខ្ជិលប៉ុណ្ណោះឯង បុគ្គលប្រព្រឹត្តខ្ជិលប្រាកដដូច្នេះ មិនអាចដើម្បីនឹងញុំាងយកវង្សជាតិ ឲ្យតាំងឡើងបាន នឹងដល់នូវសេចក្តីខ្ទល់បាកក្នុងបច្ចុប្បន្ននេះដោយពិត ព្រោះហេតុដូច្នេះបានជាអង្គសម្តេចព្រះទីបទុត្តមាចារ្យជាម្ចាស់ ព្រះអង្គទ្រង់ត្រាស់សម្តែងក្នុងសិង្គាលសូត្រថា ទិវាសោប្បសីលេន រតិឧដ្ឋានទេសិតា និច្ចមត្តេនសោណ្ឌេន សក្កា អាវសិតុំឃរំ សេចក្តីថា ផ្ទះសម្បែងគឺបុគ្គលខ្ជិលអ្នកល្មោកដេកក្នុងវេលាថ្ងៃជាប្រក្រតី មិនអាចដើម្បីនឹងគ្រប់គ្រងផ្ទះបាន ផ្ទះសម្បែងគឺ បុគ្គលខ្ជិលជាប្រក្រតីដេកក្នុងវេលាយប់មិនក្រោកឡើងប្រារព្ធនូវការងារក្នុងពេលព្រះអាទិត្យមិនទាន់រះឡើងជាប្រក្រតី មិនអាចដើម្បីនឹងគ្រប់គ្រងផ្ទះបាន ផ្ទះសម្បែងគឺបុគ្គលខ្ជិលប្រព្រឹត្តលេងល្បែងផ្សេង ៗ ជាអ្នកលេងស្រី ជាអ្នកលេងស៊ីបាយ ជាអ្នកលេងស៊ីនំ ជាអ្នកលេងស៊ីដំឡូង ជាអ្នកលេងស៊ីផឹក មានសេចក្តីស្រវឹងជាប់ជានិច្ច មិនអាច

ដើម្បីនឹងគ្រប់គ្រងផ្ទះបាន សប្បុរសទាំងឡាយគប្បីប្រព្រឹត្តតាមពុទ្ធដីកា ដូចបានអធិប្បាយមកនេះចុះ នឹងអាចធ្វើខ្លួនឲ្យបានសេចក្តីសុខ សេចក្តីចម្រើនក្នុងបច្ចុប្បន្ននេះដោយពិត ។

ព្រោះហេតុដូច្នោះហើយ បុគ្គលជាគ្រហស្ថអ្នកស្វែងរកទ្រព្យផ្ទះសម្បែង មិនគប្បីប្រព្រឹត្តខ្ជិលដេកច្រើន មិនគប្បីប្រព្រឹត្តជាបែបអ្នកលេងតែបុគ្គលប្រព្រឹត្តខ្ជិលដេកច្រើន នឹងប្រព្រឹត្តជាបែបអ្នកលេងប្រាកដដូច្នោះ បុគ្គលនោះ ទៀនតែនឹងដល់នូវសេចក្តីទុក្ខលំបាកដោយចំណែកមួយ ។ លោកសម្តែងអាងមានទិដ្ឋានថា ដូចជាកុសិតមាណព ជាកូនសិស្សនៃអាចារ្យទិសាបាមោក្ខ ថ្ងៃ១ បានទៅរកឧសជាមួយនឹងមាណពទាំង ៥០០ ដល់ទៅក្នុងព្រៃមាណពទាំងឡាយដទៃ គេចូលទៅរកកាប់ឧសទាំងអស់គ្នា ឯកុសិតមាណពកម្ជិល បានឃើញដើមថ្ងាន់១ មានម្លប់ល្អ អាងវេលាជានូវថ្ងៃនៅឡើយសេចក្តីខ្ជិលងងុយដេកបង្កើតឡើង ក្នុងពេលនោះគិតថាអញដេកសម្រាកបានបន្តិចសិនហើយក៏ដេកលក់ទៅ ដរាបទាល់តែព្រលប់មាណពដទៃគេរកឧសបានគ្រប់គ្នាត្រឡប់មកវិញ ឃើញកុសិតមាណពនៅដេកលក់នៅដដែល ហើយគេដាស់មាណពនោះឲ្យក្រោកឡើង គេប្រាប់ថាល្ងាចណាស់ហើយ ឯកុសិតមាណពក្រោកឡើងប្រញាប់ប្រញាល់ពុំទាន់ស្វាងងងុយ ប្រះឡើងទៅលើដើមថ្ងា ដៃចាប់កាច់មែកថ្ងាន់នោះ ឯមែកថ្ងាន់នោះក៏បាក់ពត់យកត្រូវភ្នែកទាំង ២ បែកខ្ទាក់ខ្ទាសទៅ ឯឧសក៏

ពុំបានក្តែកក៏ខ្វាក់ខ្លួនក៏ដល់សេចក្តីទុក្ខជាទម្ងន់ព្រោះតែលោភជេក នោះឯង គ្រហស្ថទាំងឡាយ ដែលប្រាថ្នាសេចក្តីចម្រើន កុំគប្បីប្រព្រឹត្តតាម បែបកុសិតមាណពដូចបានអធិប្បាយមកនោះឡើយ ហើយគប្បីវៀរលែងនូវវត្តដែលជាទីអាងជាទីតាំង ញ៉ាំងសេចក្តីខ្ជិលង្ហុយឲ្យកើតឡើងក្នុងចិត្តសន្តាន ជាហេតុនឹងធ្វើការងាររបស់ខ្លួនឲ្យវិករវិចរិតផ្សេងៗ ទៅដូចមានបាលីក្នុងគម្ពីរមង្គលទីបនី អដ្ឋកថាមង្គលសូត្រ ពោលអាងព្រះពុទ្ធដីកាថា: តេ ធាហកតភា អតិសីតន្តិ កម្មំ ន ករោតិ ។ល។ ឧបន្នាច ភោគា បរិក្ខយំ គច្ឆន្តីតិ អធិប្បាយថាព្រោះហេតុនោះព្រះដ៏មានព្រះភាគព្រះអង្គពោលថា វត្តជាទីអាងជាទីតាំងនៃសេចក្តីខ្ជិលមាន ៦ ប្រការគឺ បុគ្គលឯណាពោលអាងថា វេលានេះត្រជាក់ណាស់ហើយឈប់បង្អង់មិនធ្វើនូវការងារទាំងពួង ១, ពោលអាងថាវេលានេះក្តៅណាស់ ហើយឈប់បង្អង់មិនធ្វើនូវការងារទាំងពួង ១, ពោលអាងថាវេលានេះល្ងាចណាស់ ហើយ ឈប់បង្អង់មិនធ្វើនូវការងារទាំងពួង ១, ពោលអាងថាវេលានេះនៅព្រឹកណាស់ ហើយឈប់បង្អង់មិនធ្វើនូវការងារទាំងពួង ១, ពោលអាងថាឃ្លានបាយណាស់ហើយ ឈប់បង្អង់មិនធ្វើនូវការងារទាំងពួង ១, ពោលអាងថាស្រេកទឹកណាស់ ហើយឈប់បង្អង់មិនធ្វើនូវការងារទាំងពួង ១ ។

កាលបើបុគ្គលនោះ ច្រើននៅដោយសេចក្តីអាងនូវកិច្ចយ៉ាងនេះ ហើយ ភោគសម្បត្តិទាំងឡាយទាំងពួង ដែលមិនទាន់កើតឡើង ទាំងមិន

កើតឡើង គោគតាំងឡាយគឺសម្បត្តិទ្រព្យទាំងពួងដែលកើតឡើងហើយ នឹងដល់នូវសេចក្តីវិនាសទៅវិញ ។

ហេតុនេះសប្បុរសទាំងឡាយ ដែលជាអ្នកប្រាជ្ញដោយត្រូវតែវៀរលែងវត្តជាទីតាំង នៃសេចក្តីខ្ជិលទាំង៦ ប្រការនេះចេញឲ្យស្រឡះ ហើយគប្បីប្រតិបត្តិតាម ពុទ្ធឱវាទដូចបានអធិប្បាយមកហើយ បានឈ្មោះជាអ្នកប្រព្រឹត្តសំអាតការងារទាំងពួងឲ្យស្អាតល្អដោយពិត ។

សម្តែងមកក្នុងសព្វកម្មន្តវត្តបទ មាតិកាជាតំរប់ ៣ ចប់ សេចក្តីជាសង្ខេបតែប៉ុណ្ណោះ ពីនេះនឹងបានសម្តែងកាយទ្វារវត្តបទមាតិកា ជាតំរប់ ៤តទៅទៀត :

៤- ឯកាយទ្វារវត្ត : ប្រព្រឹត្តសំអាតវត្ត គឺកាយទ្វារនោះ អធិប្បាយថាសប្បុរសទាំងឡាយ គប្បីប្រព្រឹត្តរក្សាបិទឃាត់ហាមនូវអំពើអាក្រក់មិនស្អាត កុំឲ្យកើតឡើងបានក្នុងកាយទ្វារ ដូចមានបាលីក្នុងគម្ពីរសុត្តជាតកនិទានានិសង្សខ្សែ ៦ ថា :

កាយប្បកោបំ រក្ខេយ្យ   កាយេន សំវុតោ សិយា
កាយេន ទុច្ចរិតំ ហិត្វា   កាយេន សុចរិតំ ចរេ

សេចក្តីថា បុគ្គលគប្បីរក្សានូវកិរិយាកម្រើកនៃកាយ គឺញុំាងកាយមិនឲ្យកម្រើកឡើង ប្រព្រឹត្តធ្វើនូវអំពើអាក្រក់មិនស្អាតដោយកាយបុគ្គល គប្បីសង្រួមបិទឃាត់ហាម នូវអំពើអាក្រក់មិនស្អាតដោយកាយ បុគ្គលគប្បី

លះបង់នូវអំពើប្រព្រឹត្តអាក្រក់មិនស្អាតដោយកាយ បុគ្គលគប្បីប្រព្រឹត្តឲ្យស្អាតបរិសុទ្ធល្អដោយកាយ គឺវៀរលែងកាយទុច្ចរិត សេចក្តីប្រព្រឹត្តអាក្រក់ដោយកាយទាំង ៣ ប្រការ ដូចមានបាលីក្នុងគម្ពីរមង្គលទីបនីខ្សែ ៧ ថា តត្ថ បាណាតិបាតោ អទិន្នាទានំ កាមេសុមិច្ឆា-ចារោ ជាអាទិ៍សម្តេចព្រះសព្វញ្ញូបរមគ្រូជាម្ចាស់ ព្រះអង្គទ្រង់ត្រាស់សម្តែងទុកក្នុងអាគារវិន័យ ជាវិន័យសម្រាប់គ្រហស្ថ ថា បុគ្គលដែលមានចិត្តស្រឡាញ់រាងកាយរបស់ខ្លួន គប្បីប្រព្រឹត្តវៀរលែងអំពើដែលធ្វើកាយឲ្យអាក្រក់ទាំង ៣ប្រការគឺ :

១- បាណាតិបាតា.—ប្រព្រឹត្តញុំាងសត្វឲ្យធ្លាក់ចុះកន្លង គឺសម្លាប់សត្វ ជាហេតុទឹងឲ្យមានពៀរទៅខាងមុខ បើបុគ្គលឯណាប្រព្រឹត្តធ្វើអំពើបាណាតិបាត ឲ្យចម្រើនឡើងហើយ បុគ្គលនោះធ្វើមរណកាលទៅវេលាណាទឹងទៅកើតនរក រួចអំពីនរកទឹងទៅជាប្រេត រួចអំពីប្រេតទឹងទៅកើតជាអសុរកាយ រួចអំពីអសុរកាយទឹងទៅកើតជាតិរច្ឆាន រួចអំពីតិរច្ឆានដោយសេសសល់ផលកម្មនោះ ទឹងមកជាមនុស្ស មានរូបវិកលវិការផ្សេង ៗ ដ៏អាក្រក់ មានបាក់ដៃបាក់ជើង ក្រវែងក្រវង់ ខ្វិនខ្វាក់ជាដើមមានជម្ងឺអាពាធបៀតបៀនកំប្រើន មានអាយុក៏ខ្លី សេចក្តីទុក្ខកើតឡើងជានិច្ច ព្រាត់ប្រាសញាតិសន្តាន មិត្តសម្លាញ់បងប្អូនកូនចៅ ពុំបានព្រមព្រៀងគ្នា ដោយផលបាណាតិបាតនោះឯង ។

ម្យ៉ាងទៀត លោកសម្តែងអំពីទោសថា បើបុគ្គលសម្លាប់សត្វតូច មានទោសតិច ព្រោះសត្វនោះមានសរីរតូចអ្នកដែលនឹងសម្លាប់នោះមាន ព្យាយាមក៏តិច សម្លាប់សត្វធំមានទោសច្រើន ព្រោះសត្វនោះមាន សរីរធំ អ្នកដែលនឹងសម្លាប់នោះ មានព្យាយាមក៏ធំសម្លាប់សត្វតូចក្តី ធំក្តី មានទោសច្រើន ព្រោះសត្វនោះមានគុណច្រើន សម្លាប់សត្វតូចក្តី ធំក្តី មានទោសតិច ព្រោះអ្នកសម្លាប់នោះ មានកិលេសនិងព្យាយាមមិនក្លៀវក្លា សម្លាប់សត្វតូចក្តី ធំក្តី មានទោសច្រើន ព្រោះអ្នកសម្លាប់នោះ មានកិលេសនិងព្យាយាមដ៏ក្លៀវក្លា ឯបាណាតិបាតនេះ ប្រកបដោយ សាហត្ថិកបយោគ សម្លាប់ដោយខ្លួនឯង ក៏ត្រូវទោសអាណត្តិកបយោគ បង្គាប់ បើអ្នកដទៃឲ្យសម្លាប់ក៏ត្រូវទោស តែថាបើសម្លាប់ប្រកបដោយអង្គ ៥ ។

ក- បាណោ សត្វមានជីវិត

ខ- បាណសញ្ញិតា សម្គាល់ដឹងថាសត្វមានជីវិត

គ- វធកចិត្តំ ចិត្តគិតនឹងសម្លាប់

ឃ- ឧបក្កមោ ព្យាយាមនឹងសម្លាប់

ង- តេនមរណំ កិរិយាសម្លាប់សត្វនោះ ឆាប់ដោយ ព្យាយាមនោះ ។

បើបុគ្គលសម្លាប់សត្វព្រមដោយអង្គ ៥ នេះ ទើបឈ្មោះថាត្រូវ បាណាតិបាត បើសម្លាប់សត្វមិនព្រមដោយអង្គ៥ នេះទេ មិនឈ្មោះ

ជាត្រូវបាណាតិបាតឡើយ ។

បុគ្គលដែលប្រព្រឹត្តធ្វើអំពើបាណាតិបាតនេះ ឈ្មោះថា មិនស្រឡាញ់ខ្លួនមិនរក្សាខ្លួនប្រព្រឹត្តធ្វើខ្លួនឯងមិនឲ្យស្អាតល្អ ឲ្យអាក្រក់ទៅខាងមុខ ហេតុនេះសប្បុរសទាំងឡាយមិនគប្បីប្រព្រឹត្តធ្វើនូវអំពើបាណាតិបាត នេះឡើយ ត្រូវតែប្រតិបត្តិតាមព្រះពុទ្ធដីកាដូចអធិប្បាយមកនេះ ទើបបានសេចក្ដីសុខទៅខាងមុខដោយពិត ។

២- អទិន្នាទាន.- កិរិយាកាន់យកនូវទ្រព្យនៃបុគ្គលដទៃដែលគេពុំបានឲ្យហើយដោយកាយដោយវាចា ឈ្មោះថាលួចយកនូវទ្រព្យនៃបុគ្គលដទៃ ទោះលួចយកដោយខ្លួនឯងក្ដីប្រើបង្គាប់អ្នកដទៃឲ្យលួចយកក្ដី ឬ ធ្វើការឲ្យនិមិត្ត ផ្សេង ៗ មានញាក់មុខប៉ប្រិចភ្នែកដៃជើងជាដើម ឲ្យអ្នកដទៃលួចយកនូវទ្រព្យនៃបុគ្គលដទៃនោះក្ដី ក៏ឈ្មោះថាអទិន្នាទាន ដូចគ្នា ។

ម្យ៉ាងទៀត ទោសអទិន្នាទាននោះ លោកសម្ដែងថា បើបុគ្គលលួចយកនូវទ្រព្យនៃបុគ្គលដទៃមានថ្លៃថោកថយមានទោសតិចលួចយកនូវទ្រព្យនៃបុគ្គលដទៃ មានថ្លៃច្រើនមានទោសច្រើន លួចយកនូវទ្រព្យនៃបុគ្គលដទៃថោកក្ដីថ្លៃក្ដីមានទោសតិច ព្រោះបុគ្គលនោះមានគុណតិច លួចយកនូវទ្រព្យនៃបុគ្គលដទៃថោកក្ដីថ្លៃក្ដី មានទោសច្រើន ព្រោះបុគ្គលនោះមានគុណច្រើន លួចយកទ្រព្យ នៃបុគ្គលដទៃថោកក្ដីថ្លៃក្ដីមានគុណក្ដីឥតគុណក្ដីមានទោសតិចព្រោះអ្នកដែលលួចនោះ មានកិលេសទន់

ព្យាយាមតិចមិនក្លៀវក្លា មានទោសច្រើនព្រោះមានកិលេសនិងព្យាយាមច្រើនដ៏ក្លៀវក្លា ។

ឯអទិន្នាទាននេះមានបយោគដូចបាណាតិបាត ប្រកបដោយអង្គ៥គឺ:

ក-បរបរិគ្គហិតំ ទ្រព្យគឺបុគ្គលដទៃគេហួងហែងរក្សាទុក ។

ខ- បរបរិគ្គហិតសញ្ញិតា សម្គាល់ដឹង ថាទ្រព្យគឺបុគ្គលដទៃគេហួងហែងរក្សាទុក ។

គ- ថេយ្យចិត្តំ ចិត្តជាហេតុលួចយក ។

ឃ-ឧបក្កមោ ព្យាយាមនឹងលួច ។

ង- ភេទហរណំ កិរិយាលួចយកនូវទ្រព្យនោះបានដោយព្យាយាមនោះ គឺបុគ្គលលួចព្រមដោយអង្គទាំង ៥ នេះទើបត្រូវអទិន្នាទាន បើមិនព្រមដោយអង្គទាំង ៥ នេះទេមិនត្រូវអទិន្នាទាននោះឡើយ ។

បើបុគ្គលឯណា ប្រព្រឹត្តលួចយកនូវទ្រព្យ នៃបុគ្គលដទៃឲ្យច្រើនចម្រើនឡើងហើយ បុគ្គលនោះធ្វើមរណកាលទៅនឹងទៅកើតក្នុងនរកប្រេត អសុរកាយ តិរច្ឆាន សេសសល់ផលអទិន្នាទាននោះ នឹងវិលមកកើតជាមនុស្សវិញ ជាអ្នកកំសត់អត់ឃ្លានដល់នូវសេចក្តីទុក្ខលំបាក រកស៊ីចិញ្ចឹមជីវិតបានដោយកម្រ រកបានរបស់អ្វីៗ តិចតួចមក មានចោរលួចចោរប្លន់ដណ្តើមយកអស់ទៅ ដោយផលអទិន្នាទាននោះឯង ។

ហេតុនោះអ្នកទាំងឡាយជាសប្បុរសដែលមានសេចក្តីប្រាជ្ញា នឹង

ដោះខ្លួន ធ្វើខ្លួនឲ្យរួចផុតចាកពីសេចក្តីកំសត់ទ័លក្រទៅខាងមុខ ត្រូវតែវៀរលែងចាកអទិន្នាទាន ហើយប្រព្រឹត្តឲ្យសមគួរតាមព្រះពុទ្ធដីកាដូចបានអធិប្បាយមកនេះ ទើបឈ្មោះថាស្រឡាញ់ខ្លួន ធ្វើខ្លួនឲ្យស្អាតល្អទៅខាងមុខដោយពិត ។

៣- គឺ កាមេសុមិច្ឆាចារោ កិរិយាប្រព្រឹត្តខុស ប្រព្រឹត្តដ៏លាមក គឺបណ្ឌិតគប្បីតិះដៀលចំណែកមួយ ក្នុងកាមទាំងឡាយ អធិប្បាយថា បើបុរសឯណាប្រព្រឹត្តក្បត់ចិត្តប្រពន្ធហើយ ទៅធ្វើសេវនកិច្ចនឹងស្រីដទៃ ឬ ស្រីឯណា ទៅប្រព្រឹត្តក្បត់ចិត្តស្វាមីរបស់ខ្លួនហើយ ទៅសេពសន្ថវៈនឹងបុរសដទៃដោយសេចក្តីប្រាថ្នានូវអសទ្ធម្មបុរសនោះឬស្រីនោះ ឈ្មោះថាដាច់សីលកាមេសុមិច្ឆាចារ ។

ឯកាមេសុមិច្ឆាចារនេះ បើបុគ្គលឯណាប្រព្រឹត្តទៅក្នុងអគមនិយដ្ឋាន គឺទីជាទីដែលមិនគប្បីសេពគប់នោះ ប្រាសចេញចាកគុណសម្បត្តិ មានសីលគុណជាដើម បុរសនោះមានទោសតិច, បើបុគ្គលឯណាប្រព្រឹត្តទៅក្នុងអគនិយដ្ឋាន គឺទីជាទីដែលមិនគប្បីសេពគប់នោះបរិបូណ៌ដោយគុណសម្បត្តិមានសីលគុណជាដើម បុរសនោះមានទោសច្រើន ។ ម្យ៉ាងទៀតអគមនិយដ្ឋាន ទីដែលមិនគប្បីសេពគប់នោះមានគុណក្តី ឥតគុណក្តី កាមេសុមិច្ឆាចារ ដែលបុគ្គលប្រព្រឹត្តទៅដោយសេចក្តីកំហែងតាមអំណាចខ្លួនមានទោសធ្ងន់ បើបុគ្គលទាំងពីរនាក់មានសេចក្តីប្រាថ្នាស្មើគ្នាក្នុងកាមេសុមិច្ឆាចារ មានទោសស្រាល ព្រោះបុរសនោះមានកិលេសនិង

ព្យាយាមទន់មិនក្លៀវក្លា មានទោសធ្ងន់ព្រោះបុរសនោះមានកិលេស និង ព្យាយាមដ៏ក្លៀវក្លា បុគ្គលឯណាប្រព្រឹត្តសេពគប់ កាមេសុមិច្ឆាចារនេះ ឲ្យច្រើនចម្រើនឡើងហើយ បុគ្គលនោះលុះធ្វើមរណកាលក្សណក្ស័យជីវិត ទៅវេលាណា ទៀងតែទៅកើតក្នុងនរក ប្រេត ឬ អសុរកាយ ឬ តិរច្ឆាន សេសសលផលនោះ ទើបមកកើតជាមនុស្សខ្ទើយជាច្រើនជាតិ កើតជា មនុស្សឆ្កួត ជាមនុស្សមានរូបអាក្រក់គ្មានអ្នកណាមួយគេស្រឡាញ់រាប់ អានឡើយ សត្រូវដទៃតែងបៀតបៀនជានិច្ច មានតែសេចក្តីទុក្ខលំបាក ជាប្រក្រតីដោយសេសសល់ផលកាមេសុមិច្ឆាចារនោះឯង កាមេសុមិច្ឆាចារ នេះជាកាយបយោគ ប្រព្រឹត្តសេពខ្លួនឯងទើបត្រូវ បើបង្គាប់ប្រើអ្នកដទៃ ឲ្យសេពមិនត្រូវឡើយ ប្រកបដោយអង្គ ៤ ។

ក- អគមនីយវត្ថុ ទីដែលមិនគួរសេព ។

ខ- តស្មឹំសេវនចិត្តំ ចិត្តប៉ុនប៉ងដើម្បីសេពក្នុងទីដែលមិនគួរ សេពនោះ ។

គ- សេវនប្បយោគោ ព្យាយាមដើម្បីសេព ។

ឃ- មគ្គេនមគ្គប្បដិបត្តិអធិវាសនំ កិរិយាញុំាងមគ្គឲ្យដល់ចំពោះចូល ទៅតាមទ្វារមគ្គ ។

បើបុគ្គលធ្វើសេវនកិច្ចប្រកបដោយអង្គទាំង ៤ នេះ ទើបត្រូវកាមេសុមិច្ឆាចារ បើមិនប្រកបព្រមដោយ អង្គទាំង ៤ នេះទេ មិនត្រូវកាមេ-

សុមិច្ឆាចារឡើយ ។

ហេតុដូច្នេះ សប្បុរសទាំងឡាយ ដែលស្រឡាញ់រូបកាយខ្លួន ត្រូវតែវៀរលែងចាកកាមេសុមិច្ឆាចារនេះឲ្យស្រឡះចេញ ប្រព្រឹត្តឲ្យត្រូវត្រង់តាមពុទ្ធានុញ្ញាត ដូចបានសម្តែងមកហើយនេះ ទើបបានឈ្មោះថាអ្នកថែទាំរក្សាកាយខ្លួនឲ្យស្អាតបរិសុទ្ធប្រព្រឹត្តទៅខាងមុខ បុគ្គលដែលប្រព្រឹត្តធ្វើនូវអំពើបាណាតិបាត អទិន្នាទាន កាមេសុមិច្ឆាចារទាំង ៣ នេះ ឈ្មោះថា ធ្វើកាយរបស់ខ្លួនឲ្យអាក្រក់ បុគ្គលដែលបានវៀរលែងប្រព្រឹត្តធ្វើនូវអំពើទាំង ៣ ប្រការ មានបាណាតិបាតជាដើមនេះ ឈ្មោះថាធ្វើកាយរបស់ខ្លួនឲ្យល្អ ។

សម្តែងអំពីកាយទ្វារេ ១ បទមាតិកាជាគំរប់ ៤ ចប់សេចក្តីជាសង្ខេបតែប៉ុណ្ណេះ ។

តពីនេះទៅនឹងសម្តែងពី វចីទ្វារេ បទមាតិកាជាគំរប់ ៥ តទៅទៀត ឯវចីទ្វារេនោះគឺប្រព្រឹត្តសំអាតវាចាក្នុងវចីទ្វារ អធិប្បាយថា បុគ្គលគប្បីរក្សាសង្រួមឃាត់ហាមនូវពាក្យអាក្រក់ដែលមិនស្អាតល្អដោយវចីទ្វារ ដូចមានបាលីក្នុងគម្ពីរសុត្តន្តខុទ្ទកនិកាយ ខ្សែ ៦ ថា៖

វចីបកោបំ រក្ខេយ្យ វាចាយ សំវុតោ សិយា

វចីទុច្ចរិតំ ហិត្វា វាចាយ សុចរិតំ ចរេ ។

អធិប្បាយថា បុគ្គលគប្បីរក្សានូវកិរិយាកម្រើកឡើងនៃវាចា គឺថា

មិនប្រព្រឹត្តញុំាងពាក្យសម្តីដែលអាក្រក់ឲ្យកម្រើកកើតឡើងបាន បុគ្គលគប្បីសង្រួម ឃាត់ហាមនូវពាក្យពោលអាក្រក់ បុគ្គលគប្បីលះបង់នូវកិរិយាប្រព្រឹត្តអាក្រក់មិនស្អាតល្អដោយវាចាហើយគប្បីប្រព្រឹត្តឲ្យជាសុចរិត ស្អាតបរិសុទ្ធល្អដោយវាចាគឺវៀរលែងវចីទុច្ចរិត ៤ ប្រការគឺ មុសាវាទ គឺកិរិយាប្រព្រឹត្តពោលនូវពាក្យកុហកបញ្ឆោតមិនពិត ដល់អ្នកដទៃ ឲ្យគេខូចខាតប្រយោជន៍ ឲ្យគេបង់ទ្រព្យសម្បត្តិព្រោះខ្លួន ជាហេតុនឹងឲ្យមានពៀរតទៅខាងមុខ ។

ឯបុគ្គលដែលពោលនូវពាក្យ កុហកមិនពិតដល់បុគ្គលឯណា បំបាត់នូវប្រយោជន៍នៃបុគ្គលឯណា ថាបើប្រយោជន៍នោះ ជារបស់នៃបុគ្គលនោះច្រើនក៏មានទោសច្រើន បើបំបាត់នូវប្រយោជន៍នៃបុគ្គលឯណា បុគ្គលនោះមានគុណតិចក៏មានទោសតិច បំបាត់នូវប្រយោជន៍បុគ្គលឯណាដែលមានគុណច្រើនក៏មានទោសច្រើន ។ ម្យ៉ាងទៀតបុគ្គលអ្នកពោលនូវពាក្យមុសាវាទមានទោសតិច ព្រោះបុគ្គលនោះមានកិលេសទន់មិនក្លៀវក្លា មានទោសធ្ងន់ព្រោះមានកិលេសដ៏ក្លៀវក្លា ជាវចីបយោគពោលកុហកដោយខ្លួនឯង ទើបត្រូវមុសាវាទ បើប្រើបុគ្គលដទៃឲ្យពោលកុហកមិនត្រូវមុសាវាទឡើយ ។

មុសាវាទនេះមានអង្គ ៤ គឺ៖

ក· អតថំវត្ថុ វត្ថុមិនពិត ។

ខ- វិសំវាទនចិត្តំ ចិត្តប្រាថ្នាដើម្បីពោលឲ្យឃ្លាត ។

គ- តជ្ជោវាយាមោ ព្យាយាមទំនឹងពោលនូវពាក្យនោះឲ្យឃ្លាត ។

ឃ- បរស្សតទត្ថវិជាននំ កិរិយាញ៉ាំងបុគ្គលដទៃឲ្យដឹងច្បាស់ គឺជាឲ្យជឿនូវសេចក្តីដែលមិនពិតនោះឯង បើពោលនូវពាក្យកុហកប្រកបព្រមដោយអង្គទាំង ៤ នេះហើយ ទើបត្រូវមុសាវាទ បើពោលមិនប្រកបព្រមដោយអង្គទាំង ៤ នេះទេ មិនត្រូវមុសាវាទឡើយ ។

៤- បិសុណាវាចា ចេតនាជាហេតុពោលនូវពាក្យស៊កសៀតញុះញង់បំបែកបំបាក់បុគ្គលដទៃ ឲ្យគេកើតឈ្លោះប្រកែកបែកមិត្រសម្លាញ់របស់គេ ឬថានិយាយញុះញង់បំបែកមិត្រគេ ដើម្បីល្បួងយកមកជាមិត្រខ្លួនវិញ ឈ្មោះថា បិសុណាវាចា ។

ឯបិសុណាវាចានេះមានអង្គ ៤ គឺ:

ក- ភិន្ទិតព្វោបរោ បុគ្គលដទៃគឺខ្លួនគប្បីបំបែក ។

ខ- ភេទបុរេក្ខារតាបិយកម្យតា ការៈបំបែកទំលាយមិត្រគេឲ្យប្រព្រឹត្តទៅខាងមុខ ប្រាថ្នាយកមកជាមិត្រសម្លាញ់ខ្លួនឯងវិញ ។

គ- តជ្ជោវាយាមោ ព្យាយាមពោលនូវពាក្យបំបែកមិត្រគេនោះ ។

ឃ- តស្សតទត្ថវិជាននំ កិរិយាញ៉ាំងបុគ្គលនោះឲ្យដឹងច្បាស់នូវសេចក្តីនោះ ។

បើពោលប្រកបព្រមដោយអង្គទាំង ៤ នេះ ហើយទើបត្រូវ បិសុ-ណាវាចានេះ បើមិនព្រមដោយអង្គទាំង ៤ នេះទេ មិនត្រូវបិសុណាវាចាឡើយ ឯបិសុណាវាចានេះ បើនឹងហៅថា បេសុញ្ញវាចដូច្នេះវិញក៏បាន ។

៣- ផរុសវាចា គេតនាចំណែកមួយដ៏អាក្រក់តាំងឡើងព្រមដោយវិបបយោគ គឺព្យាយាមពោលពាក្យអាក្រក់ខ្លួនឯងផ្ដាច់បង់នូវសេចក្ដីកប់អានសេចក្ដីសុខនៃបុគ្គលដទៃ ញុំាងសេចក្ដីក្ដៅក្រហាយចិត្តឲ្យកើតឡើងដល់អ្នកដទៃ មានជេរប្រទេចជាដើម ឬពោលដាក់ដោតអ្នកដទៃ ពោលចំពោះ រូបណារូបនោះអាចមានចិត្តគ្នាន់ខ្ញាញ់នូវសេចក្ដីទុក្ខដ៏ក្រៃលែង ឈ្មោះថាផរុសវាចាឬ នឹងហៅថាផរុសវាចដូច្នេះវិញក៏បាន ឯផរុសវាចានេះ ទោះបីពោលនូវពាក្យល្អពិត តែចិត្តនោះអាក្រក់ទេ ក៏ឈ្មោះជាផរុសវាចា បើពោលនូវពាក្យទោះអាក្រក់ចិត្តក៏អាក្រក់ឈ្មោះថាផរុសវាចា បើពោលពាក្យអាក្រក់ទេ តែចិត្តនោះល្អប្រាថ្នានូវប្រយោជន៍ដល់បុគ្គល នោះដូចមាតានឹងបិតា ជេរប្រដៅកូនទៅជាដើម ពោលនូវពាក្យទាំងនេះមិនឈ្មោះថាផរុសវាចាឡើយ ដូចមានបាលីក្នុងគម្ពីរមង្គលទីបនីអដ្ឋកថាថ្ងៃ ៧ លោកសម្ដែងការនិទានថា៖ មានឧបាសិកាម្នាក់មានកូនប្រុសមួយកូន នោះប្រាថ្នាចង់ទៅលេងព្រៃជាមួយនឹងអ្នកស្រុក ឯមាតាក៏ឃាត់កូននោះមួងពីរដង កូននោះក៏មិនស្ដាប់នឹងចេះចេសតែដើរទៅ ឯមាតាក៏ជេរប្រទេច

ថា អាឯងទៅក៏ទៅចុះ ឲ្យក្របីព្រៃស្លាប់ក្នុងព្រៃទៅចុះ ។

ឯកូនទៅដល់ក្នុងព្រៃ ស្រាប់តែមានក្របីព្រៃមួយបោលមកបម្រុងនឹងផែកូននោះ ក៏ធ្វើសច្ចកិរិយាថា បើមាតាខ្ញុំពោលពាក្យអាក្រក់តែមានចិត្តល្អប្រាថ្នានូវប្រយោជន៍ដល់ខ្ញុំទេ ក៏សូមឲ្យក្របីព្រៃនេះឈរនៅ នៅទីនេះកុំឲ្យចូលមកដល់ឡើយ ។ ក្របីព្រៃនោះក៏ឈរនៅនឹងក្នុងទីនោះមិនអាចចូលមកបានឡើយ ។

ពោលពាក្យសម្ដីអាក្រក់ តែចិត្តល្អប្រាថ្នានូវប្រយោជន៍ដូចនិទានដែលអាងមកនេះ មិនឈ្មោះថាផរុសវាចាឡើយ ។

ផរុសវាចាមានអង្គ ៣ ៖

ក- អកោសិតព្វោបរោ បុគ្គលដទៃ ដ៏ខ្លួនគប្បីជេរ ។

ខ- កុបិតចិត្តំ ចិត្តខឹងហើយ

គ- អកោសនា កិរិយាជេរប្រទេច ។

បើពោលព្រមដោយអង្គទាំង ៣ នេះ ទើបត្រូវផរុសវាចា បើមិនព្រមដោយអង្គទាំងនេះទេ មិនត្រូវផរុសវាចាឡើយ ។

៤- សម្ផប្បលាបោ កិរិយាពោលនូវពាក្យឥតប្រយោជន៍ មាននិយាយនូវរឿងតិរច្ឆានកថាជាដើម ប្រកបដោយអង្គពីរគឺ :

ក- ភារតយុទ្ធសិតាហរណាទិ និរត្ថកថា បុរេក្ខារតា ការៈញុំាង

ពាក្យពោលឥតប្រយោជន៍មាននាំមកនូវរឿងចម្បាំងនៃការគេសេន និង រឿងនាងសិតាជាដើម ឲ្យប្រព្រឹត្តទៅខាងមុខ ។

១- តថាវូបកថាកថនំ គឺកិរិយាពោលនូវពាក្យមានសភាពដូច្នោះ ។

បើពោលព្រមដោយអង្គទាំងពីរនេះ ទើបត្រូវសម្ផប្បលាប បើមិនប្រកបដោយអង្គទាំងពីរនេះទេ មិនត្រូវសម្ផប្បលាបឡើយ សប្បុរសទាំងឡាយដែលមានសន្ដានចិត្តល្អ គប្បីវៀរលែងចាកវចីទុច្ចរិត គឺសេចក្ដីប្រព្រឹត្តអាក្រក់មិនល្អ ដោយវាចាជាហេតុនឹងឲ្យមានទោស ធ្លាក់ចុះទៅក្នុងអបាយទាំង ៤ មាននរកជាដើម រួចអំពីអបាយនោះមក ដោយសេសសល់នៃផលបាប នឹងមកកើតជាមនុស្ស មានមាត់អាក្រក់ សម្ដីអាក្រក់ និយាយសម្ដីអ្វីទៅនឹងអ្នកឯណា គេក៏មិនស្ដាប់ សូម្បីតែកូនចៅរបស់ខ្លួន ក៏មិនស្ដាប់ជាច្រើនជាតិ បុគ្គលដែលវៀរលែងមិនប្រព្រឹត្តពោលនូវវចីទុច្ចរិតទាំង ៤ យ៉ាង ដូចអធិប្បាយមកនេះ បានឈ្មោះថា ប្រព្រឹត្តសំអាតវចីទ្វាររបស់ខ្លួនឲ្យស្អាតបរិសុទ្ធល្អ ត្រូវត្រង់តាមព្រះពុទ្ធភាសិតដោយពិត សម្ដែងវចីទ្វារវត្តមាតិកា ជាគំរប់ ៥ ចប់សេចក្ដីជាសង្ខេបតែប៉ុណ្ណោះ ។

តពីនេះនឹងបានសម្ដែង មនោទ្វារវត្តមាតិកាគំរប់ ៦ តទៅទៀត ៖

មនោទ្វារវត្ត : ប្រព្រឹត្តសំអាតវត្ត គឺមនោទ្វារនោះ អធិប្បាយថា បុគ្គលគប្បីគ្រប់គ្រងសង្រួមចិត្តឃាត់ហាមចិត្តរបស់ខ្លួនមិនឲ្យ ប្រព្រឹត្តសន្សំនូវ

អារម្មណ៍ដ៏អាក្រក់មិនស្អាតល្អដូចមានបាលីក្នុងគម្ពីរសុត្តជាតក (ខ្សែ ៦)
ថា :

មនោបកោបំ រក្ខេយ្យ មនសា សំវុតោ

សិយា មនោទុច្ចរិតំ ហិត្វា មនសា សុចរិតំ ចរេ ។

អធិប្បាយថា បុគ្គលគប្បីរក្សានូវកិរិយាកម្រើកនៃចិត្ត គឺថាញ៉ាំងចិត្តមិនឲ្យកម្រើកឡើង កាន់យកនូវអារម្មណ៍ដ៏ខុសមិនស្អាតល្អ បុគ្គលគប្បីសង្រួមចិត្តឃាត់ហាមនូវសេចក្តីរិះគិតខុសដោយចិត្ត បុគ្គលគប្បីលះបង់នូវសេចក្តីប្រព្រឹត្តអាក្រក់មិនស្អាតល្អដោយចិត្ត ហើយប្រព្រឹត្តឲ្យជាសុចរិតស្អាតល្អដោយចិត្ត កាន់យកនូវអារម្មណ៍ត្រូវប្រពៃ គឺថាប្រព្រឹត្តវៀរលែងចាកមនោទុច្ចរិតទាំង ៣ ប្រការ ឯមនោទុច្ចរិតទាំង ៣ ប្រការនោះគឺ:

១ អភិជ្ឈា ចេតនាសម្លឹងយកនូវទ្រព្យនៃបុគ្គលដទៃ គឺសេចក្តីលោភចង់បានបង្អោនចិត្ត បង្អោនចិត្តទៅកាន់ទ្រព្យអ្នកដទៃ ដើម្បីយកមកជារបស់ខ្លួនឈ្មោះថា អភិជ្ឈា ។

ឯអភិជ្ឈានេះមានអង្គ ២ គឺ :

ក- បរភណ្ឌំ ទ្រព្យជារបស់នៃបុគ្គលដទៃ

ខ- អត្តនោបរិណាមនំ កិរិយាបង្អោនចិត្តទៅកាន់ទ្រព្យអ្នកដទៃដើម្បីខ្លួន ។

ចេតនាដែលប្រកបដោយអង្គទាំង ២ នេះទើបត្រូវអភិជ្ឈា បើចេតនា

មិនប្រកបដោយអង្គទាំង ២ នេះទេ មិនត្រូវអភិជ្ឈាឡើយ ។

២- ព្យាបាទ ចេតនាធម៌ញុំាងប្រយោជន៍និងសេចក្ដីសុខនៃបុគ្គលដទៃឲ្យវិនាសទៅ គឺ ជាចេតនាធម៌ដែលខឹងគំនុំគុំគួននឹងបុគ្គលឯណា ញុំាងបុគ្គលនោះឲ្យវិនាសទៅ បើធ្វើបុគ្គលនោះឲ្យវិនាសទៅពុំបាន ព្យាយាមគិតញុំាងទ្រព្យឥតវិញ្ញាណក្ខ័ទ្រព្យមានវិញ្ញាណក្ខ របស់នៃបុគ្គលនោះឲ្យវិនាសទៅឈ្មោះថា ព្យាបាទ ។

ព្យាបាទនេះមានអង្គពីរគឺ :

ក- បរសត្តោ សត្វដទៃ ។

ខ- តស្សវិនាសចិន្តា សេចក្ដីរិះគិតដើម្បីញុំាងសត្វដទៃនោះ ឲ្យវិនាសទៅ ។

ចេតនាធម៌ដែលប្រកបដោយអង្គទាំងពីរនេះ ទើបឈ្មោះថាព្យាបាទ បើចេតនាធម៌ មិនប្រកបដោយអង្គទាំងពីរនេះទេ មិនឈ្មោះថា ព្យាបាទ ឡើយ ។

៣- មិច្ឆាទិដ្ឋិ សេចក្ដីយល់ឃើញខុសប្រកាន់យកខុសថាជាត្រូវ ព្រោះមិនមានន័យកិរិយាកាន់យកដោយសមគួរតាមពិត ។ អធិប្បាយថា អង្គសម្ដេចព្រះអនន្តញាណសាស្ដាចារ្យទ្រង់សម្ដែងថាសង្ខារធម៌ទាំងឡាយជា អនិច្ចំ ទុក្ខំ អនត្តា គឺថាមិនទៀង នាំមកនូវសេចក្ដីទុក្ខមិនជារបស់នៃខ្លួន

គ្មានខ្លឹមសារ បុគ្គលឯណាពិចារណាឃើញនូវសង្ខារធម៌ជាអនិច្ចលក្ខណៈ ថាជារបស់ទៀងវិញ ជាទុក្ខលក្ខណៈថាជាសុខវិញ ជាអនត្តលក្ខណៈថា ជាខ្លួនវិញ បុគ្គលដែលពិចារណាឃើញដូច្នេះនោះ ឈ្មោះថាមិច្ឆាទិដ្ឋិ ។

ម្យ៉ាងទៀត ក្នុងគម្ពីរមង្គលទីបនីអដ្ឋកថាមង្គលសូត្រខ្សែ ៧ ថា :

មិច្ឆាទិដ្ឋិ សមាទានេ ខន្ធសិកាទយោ សេដ្ឋាតិ
តេសំអភិវាទន អញ្ជលិកម្មក្ខតបីឥកាបរិកណ្ហាទី
និកាវេតិ ។

អធិប្បាយថា បុគ្គលឯណាពិចារណាឃើញវិបរិតដោយចិត្តរិះគិត ខុសថាទេវតាទាំងឡាយមានខន្ធកុមារ និងព្រះឥស្សរជាដើម ជាប្រសើរ ដោយវិសេសក្នុងលោក ហើយធ្វើនូវកិរិយាបូជាមានអភិវាទកម្ម គឺអំពើ ធ្វើបង្អោនកាយថ្វាយខ្លួន លុតជង្គង់ថ្វាយបង្គំនិងអញ្ជលីកម្ម គឺអំពើធ្វើ នូវក្រពុំប្រាមដៃលើកឡើងប្រណម្យខមស្សការសំពះដល់ទេវតាទាំងឡាយ មានខន្ធកុមារនិងព្រះឥស្សរជាដើមនោះ និងធ្វើនូវតាំងសម្រាប់បូជាដល់ រូបភូតខ្មោចនិងព្រះព្រាំដោយគ្រឿងបូជាមានគោមជាដើម កិរិយាធ្វើយ៉ាង នេះឈ្មោះថាមិច្ឆាទិដ្ឋិ ។ ម្យ៉ាងទៀតបុគ្គលដែលកាន់យកនូវទិដ្ឋិសេចក្តី ចូលចិត្តថាសត្វបង្កើតក្នុងសុគតិនិងទុគ្គតិបានសេចក្តីសុខ និងទុក្ខ មិនមែន បង្កើតអំពីកម្មដែលបុគ្គលធ្វើល្អនិងអាក្រក់នោះទេ កើតមកអំពីសំណាក់ នៃទេវតាទាំងឡាយ មានខន្ធកុមារនិងព្រះឥស្សរជាដើម ឡើងនូវសេចក្តី

ទុក្ខនិងសុខដល់មនុស្សទាំងឡាយ បុគ្គលចូលចិត្តយ៉ាងនេះឈ្មោះថាមិច្ឆាទិដ្ឋិ ។

ឯមិច្ឆាទិដ្ឋិនេះសម្តែងដោយសង្ខេបមាន២ គឺអនិយតមិច្ឆាទិដ្ឋិ សេចក្តីយល់ឃើញខុសមិនទៀងជាសតេកិច្ឆា ប្រកបដោយកិរិយារក្សាបាន គឺជានៅប្រដៅខ្លួនបាន ព្រោះចិត្តមិនទាន់ធ្លាក់ចុះដល់ដងចិត្ត ជាគំរប់ប្រាំពីរនៅឡើយ ១, និយតមិច្ឆាទិដ្ឋិ សេចក្តីយល់ឃើញខុសប្រកាន់យកមាំជាអតេកិច្ឆា គឺអ្នកប្រាជ្ញទាំងឡាយមានព្រះពុទ្ធជាដើមប្រដៅខ្លួនពុំបាន ព្រោះចិត្តធ្លាក់ចុះដល់ដងចិត្ត ជាគំរប់ ៧ គឺបុគ្គលដែលប្រកបដោយទិដ្ឋិ ៣ យ៉ាង ៖

១- នត្ថិកទិដ្ឋិ.— សេចក្តីយល់ឃើញខុសថាអំពើដែលបុគ្គលធ្វើមានទានជាដើម មិនមានផលឥតប្រយោជន៍ទាំងអស់ ។

២- អកិរិយទិដ្ឋិ សេចក្តីយល់ឃើញខុសថាកម្មអាក្រក់និងកម្មល្អដែលបុគ្គលប្រព្រឹត្តធ្វើទាំងប៉ុន្មាន ឈ្មោះថាមិនធ្វើទាំងអស់ គ្មានបាបបុណ្យអ្វីឡើយ ។

៣- អហេតុកទិដ្ឋិ សេចក្តីយល់ឃើញខុសថាផលនិងកម្មទាំងពីរនេះមិនមានទេ សត្វដែលកើតឡើងដែលនឹងបរិសុទ្ធក៏បរិសុទ្ធដោយខ្លួនឯងដែលនឹងសៅហ្មងក៏សៅហ្មងដោយខ្លួនឯងជាធម្មតា ។ បុគ្គលដែលប្រកបដោយទិដ្ឋិទាំង ៣, នេះ ឈ្មោះនិយតមិច្ឆាទិដ្ឋិ មានទោសធំបំផុត ទៀង

តែមិនធ្លាក់ ទៅក្នុងលោកុត្តរនោះដោយពិត ។

ឯមិច្ឆាទិដ្ឋិនេះ មានអត្ថ ២ គឺ :

វិតថោគាហិតា ការវិបរិតតា ការវិបរិតប្រាសចាកអាការ ដែលកើតដោយមិច្ឆាទិដ្ឋិ គឺខ្លួនកាន់យកហើយខ្ជាប់ថែកមិនពិត ១, យថា-ចតិកណ្ហាតិ តថាការវេនតស្សប្បដ្ឋានំ បុគ្គលកាន់យកខ្ជាប់អត្ថ ដែលមិនពិតនោះដោយប្រការឯណា កិរិយាកើតឡើងប្រាកដនៃអត្ថដែល មិនពិតនោះដោយប្រការដូច្នោះ ១ ចេតសិកធម៌ដែលប្រកបដោយអត្ថទាំង ពីរនេះ ទើបឈ្មោះថា មិច្ឆាទិដ្ឋិ បើមិនប្រកបដោយអត្ថទាំងពីរនេះទេ មិនឈ្មោះថាមិច្ឆាទិដ្ឋិឡើយ អ្នកដែលបានស្តាប់ ឬបានមើលគួរពិចារណា ឲ្យច្រើន ទើបសន្និដ្ឋានថាបានយល់ខ្លះ ឬ យល់ទាំងអស់តាមប្រាជ្ញាតិច ច្រើន បើពុំនោះសោត សឹងតែពុំដឹងជាសម្តែងកន្លែងត្រង់នេះថាដូចម្តេច ទេ ។

ឯអនិយតមិច្ឆាទិដ្ឋិ ដែលមិនទៀងនោះ បើបុគ្គលបានស្តាប់ពាក្យ ប្រដៅអ្នកប្រាជ្ញហើយដឹងខ្លួនថាខ្លួនឃើញខុស លះបង់នូវទិដ្ឋិនោះចោល ចេញ បុគ្គលនោះធ្វើមរណកាលទៅទីទៅកើតក្នុងសុគតិភព បើមិន លះបង់នូវទិដ្ឋិនោះចោលចេញទៀត តែធ្វើមរណកាលទៅទីទៅកើតក្នុង ទុគ្គតិភព គឺនរកប្រេត អសុរកាយ តិរច្ឆានដោយចំណែក ១ ហេតុ ដូច្នោះយើងទាំងឡាយ ដែលប្រាថ្នាសេចក្តីសុខទៅខាងមុខ គប្បីរៀរ

លែងតាកមនោទុច្ចរិតសេចក្តីដែលប្រព្រឹត្តអាក្រក់ មិនស្អាតល្អដោយចិត្ត ទាំង ៣ យ៉ាងដូចបានសម្តែងមករួចហើយគប្បីញ៉ាំងមនោសុចរិត សេចក្តីដែលប្រព្រឹត្តសំអាតចិត្ត ឲ្យពេញបរិបូណ៌បានឈ្មោះថាប្រព្រឹត្តសំអាតវត្ថុ គឺមនោទ្វារឲ្យស្អាតបរិសុទ្ធល្អទើបនឹងបានសេចក្តីសុខ សេចក្តីចម្រើនទៅខាងមុខដោយពិត សម្តែងមនោទ្វារវត្ថុបទ មាតិកាជាគំរប់ ៦ ចប់សេចក្តីជាសង្ខេបប៉ុណ្ណោះ ។

សូមផ្សាយផលានិសង្សឲ្យបានសម្រេច ដល់សាធុសប្បុរសទាំងឡាយដែលមានជំនឿសទ្ធាជ្រះថ្លា បានស្តាប់ធម៌ទេសនាក្នុងវេលានេះ សូមឲ្យបានសម្រេចនូវសម្បត្តិទាំង ៣ ប្រការគឺ សម្បត្តិមនុស្ស ១ សម្បត្តិទេវតា ១ សម្បត្តិនិព្វានជាទីបំផុត ១ សម្តែងរឿងប្រតិបត្តិសំអាតនូវរបស់ដែលគួរសំអាតចន់ជាបទមាតិកាមាន ៦ មាតិកា មិនទាន់ចប់សព្វគ្រប់ទេ តែថាទឹងសន្តតិថាចប់ដោយសង្ខេបតែប៉ុណ្ណោះ ឯរំ ក៏សមគួរដោយនូវវេលានេះឯងហោង ។

ចប់ កាយបរិភោគាទិវត្ថុកថា

